# ព្រះ
# ត្រៃបិដកបាលី
## និង
## សេចក្តីប្រែជាភាសាខ្មែរ
# វិនយបិដក
## មហាវិភង្គ បឋមភាគ
# ១

វេរញ្ជកណ្ឌ និង បារាជិកកណ្ឌ

បោះពុម្ពលើកទី ២



ពុទ្ធសាសនបណ្ឌិត្យ ភ្នំពេញ

ឧទ្ទិសកថា

យើងខ្ញុំ សូមជូនសំណៅគម្ពីរព្រះត្រៃបិដកនេះ ដល់ប្រជាជាតិខ្មែរ ។

ឥឡូវ យើងខ្ញុំមានជូនគម្ពីរព្រះត្រៃបិដកនេះ ទៅអ្នកកាន់ព្រះពុទ្ធសាសនាជនជាតិខ្មែរបានហើយ ។ ព្រះធម៌នៃព្រះពុទ្ធជាម្ចាស់នេះ ត្រូវបានរក្សាទុកដោយស្មោះត្រង់ក្នុងចិត្តនៃអ្នកកាន់ព្រះពុទ្ធសាសនា ជនជាតិជប៉ុន ។

このカンボジア版南伝大蔵経を
カンボジアの仏教徒へ
贈ることができることに感謝します。
これが日本の仏教徒の心です。

It is with a deep sense of gratitude that I present the translation of the complete TRIPITAKA to Cambodian Buddhists on behalf of the Japanese Buddhist community.

# អារម្ភកថា

ជូនចំពោះជនជាតិខ្មែរ ជាទីរាប់អាន !

ជូនចំពោះជនជាតិខ្មែរដែលកាន់ព្រះពុទ្ធសាសនា ជាទីគោរព !

គម្ពីរព្រះត្រៃបិដកខ្មែរនេះ ត្រូវបាន " ក្រុមជំនុំព្រះត្រៃបិដក " នៃពុទ្ធសាសនបណ្ឌិត្យ នៅភ្នំពេញ បកប្រែពីភាសាបាលីមកជាភាសាខ្មែរ ចាប់ពីឆ្នាំ ១៩៣០ ទៅឆ្នាំ ១៩៦៩ គឺត្រូវចំណាយពេល ៣៩ ឆ្នាំ ទើបបានសម្រេចហើយសព្វគ្រប់ ។ គម្ពីរនេះជាកំណប់ទ្រព្យនៃព្រះពុទ្ធសាសនាខ្មែរ ហើយក៏ជាកំណប់វប្បធម៌ខាងផ្លូវចិត្តរបស់ជនជាតិខ្មែរផងដែរ ។ យើងខ្ញុំ ពុទ្ធសាសនិកជាតិជប៉ុន មានសទ្ធាជ្រះថ្លាក្រោយនឹងបោះពុម្ពជាថ្មីឡើងវិញ ដោយសង្ឃឹមថា ព្រះពុទ្ធសាសនាខ្មែរ ក៏នឹងរុងរឿងឡើងវិញដែរ ។

គម្ពីរនេះជាតំណាងចិត្តស្មោះស្ម័គ្រ ជូនទៅដល់ជនជាតិខ្មែរទាំងអស់ ព្រមទាំងមនុស្សជាតិទូទៅ នៅក្នុងពិភពលោកនេះ ដែលបានចិត្តស្រឡាញ់សន្តិភាព ។

ខ្មែរបានរងគ្រោះធ្ងន់ធ្ងរដែលមិនធ្លាប់មានពីមុនមក ។ ម្យ៉ាងទៀត ព្រះពុទ្ធសាសនាខ្មែរ ក៏ត្រូវរងគ្រោះយ៉ាងខ្លាំង ក៏ប៉ុន្តែឥឡូវនេះ យើងទាំងអស់គ្នា បានឃើញពន្លឺថ្មីពីសេចក្តីព្យាយាមដ៏ធ្ងន់ធ្ងរនេះ ជាកន្លែងដែលស្រមៃ បញ្ចប់ជំនុំជំនួន ដើរតាមពុទ្ធដីកាព្រះបរមគ្រូ និងដំណើរការធ្វើឱ្យមានសន្តិភាពក្នុងពិភពលោក ។

ការណ៍ដែលយើងខ្ញុំជូនគម្ពីរព្រះត្រៃបិដកពេលនេះ គឺជានិមិត្តរូបនៃការប្តេជ្ញាចិត្តរបស់អ្នកកាន់ព្រះពុទ្ធសាសនាជនជាតិជប៉ុន ។ យើងខ្ញុំធ្វើសមាទានចិត្តការដើម្បីសន្តិភាពក្នុងពិភពលោក ដើម្បីទុកជាស្ពានតភ្ជាប់ចំណងមេត្រីភាព និងមិត្តភាពរវាងប្រជាជាតិជប៉ុន និងប្រជាជាតិខ្មែរ ។

[illegible] កក្កដា ឆ្នាំ ១៩៩៤

សមាគមជំនួយដល់ការបោះពុម្ពព្រះត្រៃបិដកឡើងវិញ

អ្នកដឹកនាំសមាគម The Rev. Seikyo Muchaku

ប្រធានកិត្តិយស The Rev. Eiitsu Shinohara

អ្នកចាត់ការ

The Rev. Zendo Matsunaga The Rev. Jitsujo Arima The Rev. Yoshimichi Ito
The Rev. Keiichi Watai The Rev. Gijun Sugitani The Rev. Shincho Shigeta
The Rev. Kisho Maeda The Rev. Kyoshi Nakajima Mr. Rokusuke Ei

# 「トリピタカ」復刻進呈にあたって

親愛なるカンボジアの皆さん！
敬愛するカンボジアの仏教徒の皆さん！

カンボジア版『トリピタカ』は、プノンペンの仏教研究所が、仏教界の英知を集め、1930年から1968年まで、39年の歳月をかけて翻訳し、分類し、集大成して完成されました。まさにカンボジア仏教の法宝であると共に、カンボジア出版文化の至宝です。日本仏教徒の有志は、カンボジア仏教の復興再生を願いつつ、これを復刻刊行し、贈らせていただきます。

これはカンボジア仏教徒のみならず、カンボジア全人民、否、平和を愛する地球上のすべての人々への、心からの贈り物です。

カンボジアは、古今未曾有の悲劇を体験しました。カンボジア仏教もこの受難の時代に壊滅的な打撃を受けました。しかし、今はその悲しみを乗りこえ、瞋りを離れ、怨みを恕し、ブッダの教えに従い、世界平和の実現に努力するときです。

この本の贈呈は、日本の仏教徒も共々に、世界平和のために努力することを誓うしるしであり、相互の連帯と友情の証なのです。

合掌

1994年7月吉日

カンボジア版トリピタカ（南伝大蔵経）復刻救援委員会

世話人代表　無着　成恭
事務局長　篠原　鋭一

世話人　松永　然道　有馬　実成
伊藤　佳通　渡井　圭一
杉谷　義純　茂田　真澄
前田　利勝　中島　教之
永　六輔

# Acknowledgment

Dear Cambodian friends and respected members of the Cambodian Buddhist community,

It is a matter of great joy that the translation into Cambodian of the Pali Tripitaka has been completed and published. The Tripitaka Commisson of the Buddhist Institute, Phnom Penh, launched the translation project in 1930 and completed the translation, after 39 years of effort, in 1968.

The Cambodian translation of this great work will not only become a cherished treasure of the Cambodian Buddhist community but will also be an important milestone in the history of publication in Cambodia.

The revival and prosperity of Buddhism in Cambodia are the ardent wish of the Japanese Buddhist community, it is in this spirit that we have completed this important project and now present the entire work to the Cambodian Buddhist community, it is a gift not only to the Buddhist community in Cambodia but also to all Cambodian people and all peace-loving people in the world.

Cambodia experienced great tragedies in modern times, and the Cambodian Buddhist community also underwent severe trials and suffered crushing blows during this period. But now a time has come to surmount grief and anger, to forgive, and to start working again for world peace.

This great work is a symbol of the Japanese Buddhist community's resolve to work with our Cambodian brothers and sisters toward world peace and is a testimony to the friendship between our people.

With hands joined in reverence.
July 1994

TRIPITAKA PUBLISHING SUPPORT COMMITTEE
Project Manager : The Rev. Seikyo Muchaku
Secretary General : The Rev. Eiitsu Shinohara
Management Team :
The Rev. Zendo Matsunaga　The Rev. Jitsujo Arima　The Rev. Yoshimichi Ito
The Rev. Keiichi Watai　The Rev. Gijun Sugitani　The Rev. Shincho Shigeta
The Rev. Risho Maeda　The Rev. Kyoshi Nakajima　Mr. Rokusuke Ei

Les fonds nécessaires à l'édition du premier volume du TRIPITAKA ont été offerts personnellement par Monsieur PAUL REYNAUD, Ministre des Colonies, en témoignage de l'intérêt que le Gouvernement de la République Française porte au Peuple Cambodgien.

Un exemplaire de ce premier volume a été remis le Vingt-Deux Octobre Mil Neuf Cent Trente et Un, en audience solennelle, à SA MAJESTÉ SISOWATH MONIVONG par Monsieur PAUL REYNAUD, assisté de Monsieur le Gouverneur Général PASQUIER et de Monsieur le Résident Supérieur LAVIT, en présence du Conseil des Ministres, des Chefs de Secte et d'une délégation de tous les bonzes du Royaume.

ប្រាក់ចំណាយ ក្នុងការបោះពុម្ពព្រះត្រៃបិដកខ្មែរនេះ គឺលោកប៉ូលរេណូ សេនាបតីក្រសួងប្រទេសរាជ្យអាណាខេត្ត ដើម្បីឲ្យឃើញជាក់ស្តែងនៃប្រយោជន៍ដែលកើតការប្រជាធិបតី ជាពិសេស នាំមកឲ្យដល់ខេមរជាតិ ។

សៀវភៅនីពនេះ លោកប៉ូលរេណូ បានថ្វាយមួយខ្សែចំពោះព្រះករុណាព្រះបាទសម្តេចព្រះស៊ីសុវត្ថិមុនីវង្ស ចមចក្រពង្ស ក្នុងឱកាសដែលចូលគាល់ជាមង្គល អំពីថ្ងៃថ្លៃតិកគុណ ឆ្នាំមួយពាន់ប្រាំបួនរយសាមសិបមួយ ជួបជុំជាមួយនឹងលោក ឡឺត្យ៉ុនហ្វែរណើរ យោណេ-កលហាស្តីយេរ នឹងលោក ឡឺរេស៊ីដង់ សុបេរីយើរ ឡាវីត នៅពីចំពោះមុខអស់លោកក្រុមស្បៀងសេនាបតី ទូព្រះសង្ឃនាយកគណៈ នឹងតំណាងសង្ឃគ្រប់អន្តរ ក្នុងស្រុកខ្មែរមួយព្រែក ។

# ព្រះរាជពតិមាន

---

*ព្រះបាទសម្តេចព្រះស៊ីសុវត្ថិមុនីវង្ស ចមចក្រពង្ស ហរិរក្សបរមិន្ទរក្សាវៀណ ដែលហៅសុខ្ខេទ្យ ព្រះចៅក្រុងកម្ពុជាធិបតី ជាអម្ចាស់ជីវិតលើត្បូង*

ទ្រង់សូមអំណរព្រះតេជព្រះគុណ ជាបឋមហេតុនៅទីនេះ ដល់ក្រុងបារាំងសែស ដែលជួយទំនុកបម្រុងក្រុងកម្ពុជា ដោយសុចរិតបានច្រើនរុងរឿងរៀងមកនឹងតទៅមុខ ហើយដោយបានបង្កើតមន្ទីរពុទ្ធសាសនបណ្ឌិត្យ បានយកចិត្តទុកដាក់ជួយទំនុកបម្រុងនឹងផ្សាយព្រះបារមីព្រះពុទ្ធសាសនា នឹងជួយឲ្យបោះពុម្ព

ព្រះត្រៃបិដកជាទីមឫសកែវព្រះពុទ្ធសាសនា ជាសេចក្តីរាប់អាន
ពេញចិត្តរបស់បណ្តាខេមរជនទាំងអស់គ្មានសល់ ហើយទ្រង់
ពុំមានញ្ញបឡើយ បំពោះអំណរអរគុណដល់ពួកឧបាសក
ឧបាសិកាដែលមានចិត្តសទ្ធាជ្រះថ្លា បញ្ចេញប្រាក់ចូលជួយឲ្យ
ការដ៏ឧត្តមនេះបានសម្រេច ។

ទ្រង់មានសេចក្តីសោមនស្សជាទីបំផុត ដែលក្នុងរាជផែនដី
ទ្រង់ព្រះករុណាបានសម្រេចឲ្យមានក្រុមជំនុំព្រះសង្ឃបណ្ឌិតប្រែ
ព្រះបាឡីក្នុងគម្ពីរព្រះត្រៃបិដក គឺភាជនៈទាំង ៣ ដែលដឹកល់ដាក់
ក្បួនព្រះពុទ្ធសាសនា មានទាំងអស់ប្រាំបីម៉ឺនបួនពាន់ព្រះធម្មក្ខន្ធ
មកជាភាសាខេមរៈដាក់ស្តែង ឲ្យបោះពុម្ពទាំងបាឡីនឹងសម្រាយ
ជាសៀវភៅផ្សាយព្រះមតុរសក្នុងព្រះវិន័យ គឺកាន់ក្រិត្យនឹងគំនិត
មារយាទ ។ ព្រះសូត្រគឺព្រះធម៌សំរាប់ប្រដៅសត្វឲ្យកាន់វិធី
ត្រង់ ។ ព្រះអភិធម្ម គឺញាំងផ្លូវព្រះបរមនិព្វានដែលព្រះពុទ្ធអង្គ
ព្រះសមណគោតមបានត្រាស់ហើយ ទ្រង់សំដែងទុកឲ្យមនុស្ស



លោកកាន់ប្រព្រឹត្តឲ្យត្រឹមត្រូវ នឹងបានតម្រង់ចេតសិករាល់រូប
កាយ ឲ្យប្រកបដោយសេចក្តីបរិសុទ្ធ ជាបំហុតក្នុងការកុសល
ទើបបង្កើតជាមគ្គផល ដែលអាចធ្វើឲ្យបានសេចក្តីញមក្សាន្ត
នឹងចំពីនសិរីសួស្តីដ៏ប្រពៃថ្លៃឧត្តម ជាបរមសុខ ដល់បរិសទ្យ
ទាំងពួងគ្រប់គ្នា ។

ដោយហេតុព្រះធម៌វិសេសទាំងនោះសុទ្ធតែជាបាឡីពីព្រះ
ពុទ្ធវចនៈពីបុរាណតាំងពីមុនព្រះពុទ្ធសករាជ ២៤៧៤ ទៅទៀត
បានជាព្រះសង្ឃនឹងឧបាសកច្រើនរៀនបោះចាំបាន តែមិនយល់
ច្បាស់ថាជាអ្វី បានជាព្រះករុណាទ្រង់ព្រះរាជតំរិះព្រមនឹងរាជការ
ប្រតិកត្តរាត់ក្រុងបារាំងសែស មានលោកឡែផស៊ុងង៉ត់ស៊ុយ៉េរីយេរ
ហ្វេណង់ឡារិត ជាតំណាង ដែលទ្រង់សូមអំណរគុណដោយ
រួសរាន់ ក្នុងឱកាសដែលបានជួយគិតសម្រេចមហាប្រយោជន៍
ឧត្តមនេះ ឲ្យបានចំរើនតំរិះប្រាជ្ញាជាតិខេមរៈ ឲ្យកាន់តែបោះ
ជំហរមាំមួនឡើង ដើម្បីនឹងរក្សាព្រះពុទ្ធសាសនាឲ្យខ្ជាប់ខ្ជួនជាទី

រុងរឿងនៃក្រុងកម្ពុជា ផងអាក់ ដោយបានតាំងមន្ទីរពុទ្ធ-សាសនបណ្ឌិត្យ និងព្រះរាជបណ្ណាល័យ ហើយឲ្យបោះពុម្ពគម្ពីរព្រះត្រៃបិដក ទុកជាគោល ដើម្បីឲ្យអស់មហាជនទាំងឡាយដែលកាន់ព្រះពុទ្ធសាសនាក្នុងប្រទេសឥណ្ឌូចិនទាំងមូល រឹតតែជឿព្រះពុទ្ធសាសនាមហាប្រសើរថែមទៀត ។

ធ្វើក្នុងព្រះបរមរាជវាំងក្រុងភ្នំពេញបតុម្ពនៅថ្ងៃព្រហស្បតិ៍ ១៣ រោចខែស្រាពណ៍ ឆ្នាំមមែត្រីស័ក ព្រះពុទ្ធសករាជ ២៤៧៤ ត្រូវនឹងថ្ងៃ ១០ កញ្ញា ឆ្នាំ ១៩៣១ ។

---

## ការងាររបស់ក្រុមជំនុំ

### ប្រវត្តិហេតុការកសាងព្រះត្រៃបិដក

ការផ្ទៀងព្រះត្រៃបិដកជាភាសាបាលី និងការប្រែពីបាលីមកជាសម្រាយភាសាខ្មែរនេះ យើងជាក្រុមជំនុំបានចាប់ផ្តើមធ្វើតាំងពីថ្ងៃ ៣ កើតខែបុស្ស ឆ្នាំមមីទោស័ក ពុទ្ធសករាជ ២៤៧២ ត្រូវនឹងថ្ងៃទី ២ ខែមករា ១៩៣០ នៅមន្ទីរព្រះរាជបណ្ណាល័យកម្ពុជា ក្រុងភ្នំពេញ ក្នុងក្រសួងពុទ្ធសាសនបណ្ឌិត្យ ។ ការកសាងព្រះត្រៃបិដកនេះ កើតឡើងដោយព្រះករុណាព្រះបាទសម្តេចព្រះស៊ីសុវត្ថិមុនីវង្ស ព្រះចៅក្រុងកម្ពុជា ដែលទ្រង់ព្រះបិត្តបង់ឧបត្ថម្ភព្រះពុទ្ធសាសនា ដោយការបោះពុម្ពផ្សាយព្រះត្រៃបិដក ហើយប្រគល់ការបោះពុម្ពនេះ មកឲ្យព្រះរាជ-បណ្ណាល័យ ។ ការកសាងព្រះត្រៃបិដកនេះកើតឡើងដោយរាជការប្រតិកត្តភាពផង ដោយបានបង្កើតពុទ្ធសាសនបណ្ឌិត្យ

ហើយតម្រូវការឲ្យជួយព្រះរាជបណ្ណាល័យ នឹងឲ្យយកចិត្តទុកដាក់ក្នុងការទាំងឡាយ ដែលមានឧត្តមប្រយោជន៍ដល់ព្រះពុទ្ធសាសនា ។

អំពីសេចក្ដីចំរើននៃការបោះពុម្ពព្រះត្រៃបិដក

សេចក្ដីចំរើនដែលនាំមុខការបោះពុម្ពព្រះត្រៃបិដកនេះ ឲ្យប្រព្រឹត្តទៅដោយស្រួល តែមានទើសទាក់នោះ ព្រោះអាស្រ័យប្រាក់ចំណូលជួយមានសេចក្ដីតទៅនេះ :

១ ដោយព្រះករុណាជាម្ចាស់ជីវិត ព្រះចៅក្រុងកម្ពុជាទ្រង់បានចំណាយប្រាក់ព្រះរាជទ្រព្យសម្រាប់ព្រះអង្គ ជួយទំនុកបម្រុងក្នុងការបោះពុម្ពនេះ ហើយទ្រង់បានពន្យល់ព្រះរាជវង្សានុវង្សទូវអស់លោកមន្ត្រីធំតូច នឹងព្រះភិក្ខុសង្ឃ បើរាទុក្ខោះ រាជាគណៈហានានុក្រមឲ្យជួយទំនុកបម្រុងក្នុងការបោះពុម្ពនេះផង ។

២ ដោយព្រះរាជវង្សានុវង្សនឹងអស់លោកកុងស៊ុយសេនាបតីទូវអស់លោកមន្ត្រីធំតូច នឹងព្រះភិក្ខុសង្ឃរាជាគណៈហានានុក្រម នឹងពុទ្ធសាសនិកជនទាំងឡាយក្នុងកម្ពុជរដ្ឋទាំងមូល ព្រមទាំងពុទ្ធសាសនិកជនក្នុងដែនកូសាំងស៊ីនផង បានបរិច្ចាគទ្រព្យបួលជួយតាមកំឡាំងសទ្ធាក៏មាន បានបរិច្ចាគទ្រព្យទទួលយកដុល់ពេញមួយចប់ ឬច្រើនចប់ក៏មាន ។



៣ ដោយប្រាក់ចំណូលផ្សេង ក្រៅអំពីប្រាក់ដែលបានថ្លែងខាងលើនោះក៏មាន ។ ក្នុងឱកាសនេះលោកប៉ូលប៉េយណូទ៍ សេនាបតី ក្រសួងត្រួតត្រាប្រទេសរាជ្យជាស្រុកចំណុះ ដែលលោកមានដំណើរអញ្ជើញពីមហានគរបារាំងសែស មកឯប្រទេសឥណ្ឌូចិន បានជ្រាបអំពីការបោះពុម្ពព្រះត្រៃបិដកនេះ លោកក៏មានអធ្យាស្រ័យត្រេកអរជាមួយផង ហើយបានបរិច្ចាគទ្រព្យរបស់លោកបួលជួយឧបត្ថម្ភការបោះពុម្ពនេះ ដើម្បីសំដែងឲ្យឃើញជាក់ស្ដែងថា លោកមានអំណរជាទីបំផុត ក្នុងការបោះពុម្ពព្រះត្រៃបិដកនេះ ។

អំពីសេចក្ដីយល់ឃើញ
និងសេចក្ដីពេញចិត្តរបស់ក្រុមជំនុំ

យើងជាក្រុមជំនុំយល់ឃើញថា ដែលព្រះករុណាជាម្ចាស់ជីវិតជាមួយនឹងរាជការប្រូតិកតូរ៉ាត់ បានចាត់ការបោះពុម្ពព្រះត្រៃ-

បិដកទាំងបាឡីទាំងសម្រាយភ្ជាប់ជាមួយគ្នានេះ ជាការវិសេសប្រសើរបំផុត រាប់ថាជាកុសលដ៏ធំបណ្ដាប់ អាចឲ្យឈ្មោះពេញទំហំ បានលើកសង្គាយនា យើងកំណត់តាមការនេះថា «ឧត្តមសង្គីតិ» ប្រែថា «ការលើកសង្គាយនាដ៏ប្រសើរបំផុត» ព្រោះតាំងពីសង្គាយនាជាន់ណា ៗ មក ក៏មិនឮមានសេចក្ដីដំណាលថា ដែលបានប្រែជាសម្រាយផង ដរាបដល់ចប់ព្រះត្រៃបិដក ដូចសង្គាយនាក្នុងជាន់នេះទេ ។ ដោយហេតុនេះយើងមានអំណរនឹងសេចក្ដីពេញចិត្តដ៏ក្រៃលែង ដោយមានសង្ឃឹមជាប្រាកដ ដូចសេចក្ដីដែលយើងថ្លែង ដោយសង្ខេបតទៅនេះ

១ អ្នកកាន់ព្រះពុទ្ធសាសនាក្នុងកម្ពុជរដ្ឋទាំងមូល នឹងមានសេចក្ដីប្រតិបត្តិត្រូវផ្លូវគ្នា ព្រោះមានព្រះត្រៃបិដកនេះជាគ្រូប្រាប់ខុសត្រូវ ជាគោលបារិកសម្រាប់អាងត្រូវគ្នាតែបែបមួយ ហើយនឹងបានកំចាត់បង់នូវអស្មិមានះប្រកាន់ខុសថាជាត្រូវនោះចេញ។

២ ព្រះត្រៃបិដកនេះទុកជាប្រទីបផ្ទាលផ្ទះបំភ្លឺអស់មហាជន ឲ្យឃើញសេចក្ដីខុសត្រូវជាក់មិនភាន់ច្រឡំ នាំឲ្យកើត



មានប្រាជ្ញាស្មារតីល្អ ចេះអៀនខ្មាសរអៀស អាស្សប់ខ្ពើមអំពើអាក្រក់ ឲ្យខ្មីឃ្មាតសង្វាតខំប្រឹងប្រព្រឹត្តសុចរិតល្អគ្រប់ ដែលជាឫសបង្កើតសេចក្ដីសុខឲ្យមានបរិបូណ៌ឡើង ។ កាលបើអស់បណ្ដាជន មានសេចក្ដីអៀនខ្មាស ជ្រេញចិត្តនឹងអំពើអាក្រក់ហើយ ប្រទេសក៏នឹងថ្កើងរុងរឿង មានកេរ្តិ៍ឈ្មោះក្រអូបសាយទៅក្នុងលោកទាំងមូល ពីព្រោះធម៌សុចរិត មានក្លិនក្រអូបជាបំផុត ជាងក្លិននៃគ្រឿងក្រអូបទាំងអស់ ។

### អំពីរបៀបការរបស់ក្រុមជំនុំ

របៀបមុខការគ្រប់យ៉ាង ដែលបានរៀបចំព្រះត្រៃបិដកនេះ យើងជាក្រុមជំនុំ បានធ្វើដោយកំឡាំងព្យាយាមដ៏មាំមួន ព្រមទាំងបានពិនិត្យពិច័យ ដោយល្អិតល្អ ដូចមានសេចក្ដីរាយដំណើរការតទៅនេះ:

១ បណ្ដាព្រះត្រៃបិដក គឺព្រះវិន័យ ព្រះសូត្រ ព្រះអភិធម្ម យើងបានចាប់រៀបចំព្រះវិន័យបិដកមុន រួចហើយ

ទើបរៀបចំព្រះសុត្តន្តបិដក និងព្រះអភិធម្មបិដកតៗទៅ ធ្វើតាមរបៀបហូរហែ គឺតាមលំដាប់គម្ពីរមុនក្រោយ ។

២ យើងបានយកព្រះត្រៃបិដក អក្សរខមគម្ពីរស្លឹករឹតមក ធ្វើជាច្បាប់ដើម ចម្លងស្រង់បាឡីដាក់ក្រដាស ហើយបានយកព្រះត្រៃបិដកគ្រប់យ៉ាង ដែលមាននៅក្នុងព្រះរាជបណ្ណាល័យកម្ពុជា មកធ្វើជាច្បាប់ផ្ទៀងធៀបគ្នា ។ បើផ្ទៀងធៀបគ្នាទៅហើយឃើញមានបាឡីត្រង់ណាដែលផ្សេងគ្នាខ្លះ យើងបានស្រង់បាឡីនោះយោងលេខមកដាក់ត្រង់កន្លែងនយលក្ខណៈ "កំណត់ហេតុពន្យល់" ខាងក្រោមមានគំនូសខណ្ឌរាំងដោយឡែកឯលេខដែលយោងមកនោះខាងលើនិងខាងក្រោមត្រូវគ្នាៗ គម្ពីរព្រះត្រៃបិដកប្រទេសឱរ៉ុប យើងកំណត់តាមដោយបាឡីថា ឱរោបិយបោត្ថក ប្រើអក្សរជាអាទិសង្កេតន័យតែ ១ តួថា ឱ. ។ គម្ពីរភូមាថា មរម្មបោត្ថក ប្រើអាទិសង្កេតន័យថា ម. ។ គម្ពីរមនថា រាមញ្ញបោត្ថក ប្រើអាទិសង្កេតន័យថា រា. ។ ឯព្រះត្រៃបិដកអក្សរសៀម យើងមិនបានផ្ញើក្នុងនយលក្ខណៈទេ ព្រោះមាន



ទំនងដូចគ្នានឹងច្បាប់អក្សរខមដែរ ។ បើក្នុងច្បាប់អក្សរខមក្តី អក្សរសៀមក្តី មានបាលីផ្សេងគ្នាខ្លះដោយអន្លើៗនោះ យើងយោងលេខផ្ញើមកក្នុងនយលក្ខណៈ ប្រាប់ដំណើរដែលផ្សេងគ្នានោះដែរ ។

៣ លុះបានផ្ទៀងបាលីដោយត្រឹមត្រូវហើយ ទើបយកបាឡីនោះមកប្រែរៀងសេចក្តីជាក្រោយ ។ ឯការប្រែនោះយើងបានយកគម្ពីរអដ្ឋកថា ដីកា យោជនា មកមើលជាពិរាប ដើម្បីឲ្យឃើញសេចក្តីជាក់ប្រាកដ ប៉ុន្តែមិនបានប្រែអធិប្បាយតាមន័យក្នុងអដ្ឋកថា ដីកា នោះទេ យើងប្រែតាមលំអានបាឡីព្រះត្រៃបិដក "តួដើម" នោះប៉ុណ្ណោះ គឺថាបាឡីនោះមានសេចក្តីប៉ុន្មាន យើងប្រែឲ្យគត់តែត្រឹមប៉ុណ្ណោះឯង តែបើសព្ទប្រយោគណា ដែលមានសេចក្តីបង្កៀតពិបាកយល់ នោះយើងបន្ថែមពាក្យ ឬសេចក្តីខ្លះ តាមន័យក្នុងអដ្ឋកថា ដីកា ដាក់ក្នុងវង់ក្រចក ( ) នេះ សំគាល់ឲ្យដឹងថា ពាក្យឬសេចក្តីនោះបញ្ចូលថែមបានទេ ។

ម្យ៉ាងទៀត ប្រយោគខ្លះ មានដំណើរពាក្យពិបាកប្រែឲ្យសេចក្តីស្រួលមកជាសម្រាយនោះពេក បើលុះតែបន្ថែមពាក្យថែមមកខ្លះ ទើបមិនដាច់សេចក្តី កាលបើដូច្នេះ យើងបញ្ចូលពាក្យថែមមកខ្លះដាក់ក្នុងវង់ក្រចក ( ) នេះ ដែរ ដូចជាពាក្យថា (នេះ)(នោះ) ជាដើម ដើម្បីឲ្យស្រួលតាមលំនាំសេចក្តីភាសាខ្មែរ ។

៤ ពាក្យឬប្រយោគណា ដែលមានសេចក្តីជ្រៅកំបាំងពេក បើមិនទាញយកមកអធិប្បាយពន្យល់ផងទេ មុខជានឹងអាចចូលចិត្តសេចក្តីមិនបាន នោះយើងបានស្រង់យកសេចក្តីអធិប្បាយពីក្នុងអដ្ឋកថា ឬដីកា យោងលេខមកដាក់ត្រង់នយ-លក្ខណៈខាងក្រោម ដើម្បីឲ្យងាយយល់សេចក្តីជាក់ប្រាកដឡើងបាន ។

៥ លុះប្រែរួចចម្លងសម្រេចស្រេចហើយ យើងបានប្រជុំគ្នាផ្ទៀងផ្ទាត់យល់ព្រមថាត្រឹមត្រូវហើយ ក៏ជូនសេចក្តីចម្លងបាលីនឹងសម្រាយនោះ ចូលទៅអស់លោកកុងស៊ីយ៍សេនាបតីតាម



ក្រសួង ត្រាតែបានអនុញ្ញាតអំពីលោកឡឺរេស៊ីដង់ស៊ុបេរីយើរ និងអស់លោកកុងស៊ីយ៍សេនាបតី ព្រមទាំងសម្តេចព្រះសង្ឃ-នាយកទាំងពីរគណៈស្រេចហើយ ទើបរាជការចាត់ចែងឲ្យបោះពុម្ពទៅ ។

៦ ក្នុងកាលដែលបោះពុម្ពព្រះត្រៃបិដកនេះ រាល់សៀវ-ភៅទាំងអស់ យើងបានផ្ទៀងវិញ្ញាសាពុម្ព ដោយប្រុងប្រយ័ត្នពិនិត្យពិច័យមាំមួនណាស់ តែជាធម្មតាការបោះពុម្ពច្រើនដល់ម្លេះ បើទុកជាពិនិត្យពិច័យយ៉ាងណា ក៏គង់តែនៅមានភ្លាត់ខុសខ្លះបន្តិចបន្តួចមិនលែង ។

---

# បឋមោ ភាគោ

---

## នមោ តស្ស ភគវតោ អរហតោ សម្មាសម្ពុទ្ធស្ស ។

### វេរញ្ជកណ្ឌំ

(១) តេន សមយេន ពុទ្ធោ ភគវា វេរញ្ជាយំ វិហរតិ នឡេរុបុចិមន្ទមូលេ មហតា ភិក្ខុសង្ឃេន សទ្ធឹ បញ្ចមត្តេហិ ភិក្ខុសតេហិ ។ អស្សោសិ ខោ វេរញ្ជោ ព្រាហ្មណោ សមណោ ខលុ ភោ គោតមោ សក្យបុត្តោ សក្យកុលា បព្វជិតោ វេរញ្ជាយំ វិហរតិ នឡេរុបុចិមន្ទមូលេ មហតា ភិក្ខុសង្ឃេន សទ្ធឹ បញ្ចមត្តេហិ ភិក្ខុសតេហិ ។ តំ ខោ បន ភវន្តំ គោតមំ ឯវំ កល្យាណោ កិត្តិសទ្ទោ អព្ភុគ្គតោ ឥតិបិ សោ ភគវា អរហំ សម្មាសម្ពុទ្ធោ វិជ្ជាចរណសម្បន្នោ

# ភាគទី ១

---

## សូមនមស្ការថ្វាយបង្គំ ចំពោះព្រះដ៏មានព្រះភាគជាអរហន្ត សម្មាសម្ពុទ្ធ ព្រះអង្គនោះ ។

### វេរញ្ជកណ្ឌ

(១) សម័យនោះ ព្រះសម្ពុទ្ធជាម្ចាស់ដ៏មានជោគ ទ្រង់គង់នៅក្បែរដើមស្តៅ ជាលំនៅរបស់នឡេរុយក្ស ជិតស្រុកវេរញ្ជា ជាមួយនឹងភិក្ខុសង្ឃមានប្រមាណប្រាំរយរូប ។ វេរញ្ជព្រាហ្មណ៍(១) បានឮច្បាស់ (ឮដំណឹងតៗគ្នាហើយ ទើបប្រកាសសេចក្ដីថា) ម្នាលគ្នាយើង បានឮថា ព្រះសមណគោតម ជាសក្យបុត្រចេញចាកសក្យត្រកូល ទៅទ្រង់ព្រះផ្នួស ស្ដេចគង់នៅក្បែរដើមស្តៅ ជាលំនៅរបស់នឡេរុយក្ស ជិតស្រុកវេរញ្ជា ជាមួយនឹងភិក្ខុសង្ឃមានប្រមាណប្រាំរយរូប ។ កិត្តិសព្ទដ៏ពីរោះរបស់ព្រះគោតមដ៏ចំរើននោះ ឮខ្ចរខ្ចាយ សុះសាយ យ៉ាងនេះថា ព្រះដ៏មានព្រះភាគអង្គនោះ ទ្រង់ព្រះនាមថា អរហំ ព្រោះព្រះអង្គឆ្ងាយចាកសេចក្ដីសៅហ្មងគ្រប់យ៉ាង ជា សម្មាសម្ពុទ្ធោ ព្រោះព្រះអង្គត្រាស់ដឹងនូវញេយ្យធម៌ទាំងពួង ដោយប្រពៃចំពោះព្រះអង្គ ជា វិជ្ជាចរណសម្បន្នោ

---

១ ក្នុងអដ្ឋកថា ថា ព្រាហ្មណ៍នេះឈ្មោះ ឧទយៈ ដែលហៅថា វេរញ្ជៈ ដោយហៅតាមឈ្មោះស្រុកវេរញ្ជាជាស្រុករបស់គាត់នៅ ។

សុគតោ លោកវិទូ អនុត្តរោ បុរិសទម្មសារថិ សត្ថា ទេវមនុស្សានំ ពុទ្ធោ ភគវាតិ សោ ឥមំ លោកំ សទេវកំ សមារកំ សព្រហ្មកំ សស្សមណព្រាហ្មណិំ បជំ សទេវមនុស្សំ សយំ អភិញ្ញា សច្ឆិកត្វា បវេទេតិ សោ ធម្មំ ទេសេតិ អាទិកល្យាណំ មជ្ឈេកល្យាណំ បរិយោសានកល្យាណំ សាត្ថំ សព្យញ្ជនំ កេវល-បរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ បកាសេតិ សាធុ ខោ បន តថារូបានំ អរហតំ ទស្សនំ ហោតីតិ ។

(២) អថខោ វេរញ្ជោ ព្រាហ្មណោ យេន ភគវា តេនុបសង្កមិ ឧបសង្កមិត្វា ភគវតា សទ្ធឹ សម្មោទិ សម្មោទនីយំ កថំ



ព្រោះព្រះអង្គបរិបូណ៌ ដោយវិជ្ជានិងចរណៈនឹងសេចក្ដីចេះដឹងនិងគ្រឿងដែលបុគ្គលគប្បីប្រព្រឹត្ត ជា សុគតោ ព្រោះព្រះអង្គមានដំណើរល្អ ទៅកាន់ព្រះនិព្វាន ជា លោកវិទូ ព្រោះព្រះអង្គជ្រាបច្បាស់នូវត្រៃលោក ជា អនុត្តរោ ព្រោះព្រះអង្គប្រសើរ ដោយសីលាទិគុណ រកបុគ្គលណាមួយស្មើគ្មាន ជា បុរិសទម្មសារថិ ព្រោះព្រះអង្គជាអ្នកទូន្មាននូវបុរសដែលគួរទូន្មានបាន ជា សត្ថា ទេវមនុស្សានំ ព្រោះព្រះអង្គជាគ្រូនៃទេវតានិងមនុស្សទាំងឡាយ ជា ពុទ្ធោ ព្រោះព្រះអង្គបានត្រាស់ដឹងនូវអរិយសច្ចធម៌ ជា ភគវា ព្រោះព្រះអង្គលែងវិលត្រឡប់មកកាន់គភ៌ទៀត ព្រះអង្គបានត្រាស់ដឹង ម្នាក់ឯងធ្វើឲ្យជាក់ច្បាស់ចំពោះព្រះអង្គនូវលោកនេះ ព្រមទាំងទេវលោក មារលោក ព្រហ្មលោក ចំពោះព្រះអង្គ ទ្រង់ញុំាងនូវពពួកសត្វ ព្រមទាំងសមណៈនិងព្រាហ្មណ៍ ទាំងមនុស្សជាសម្មតិទេព និងមនុស្សដ៏សេស ហើយទ្រង់ប្រកាស ទ្រង់សំដែងធម៌ ពីរោះបទដើម បទកណ្ដាលនិងបទចុង ព្រះអង្គប្រកាសនូវព្រហ្មចរិយធម៌ ព្រមទាំងអត្ថនិងព្យញ្ជនៈដ៏ពេញបរិបូណ៌បរិសុទ្ធទាំងអស់ គឺដំណើរដែលបានឃើញ មានដូចនឹងព្រះអរហន្តទាំងឡាយ មានសភាពយ៉ាងនេះ ជាការប្រពៃពេក ។

(២) គ្រានោះ វេរញ្ជព្រាហ្មណ៍ក៏ចូលទៅគាល់ក្នុងទីដែលព្រះដ៏មានព្រះភាគគង់ លុះចូលទៅគាល់ហើយ ក៏ពោលពាក្យរាក់ទាក់ សំណេះ

សារាណីយំ វីតិសារេត្វា ឯកមន្តំ និសីទិ ។ ឯកមន្តំ និសិន្នោ ខោ វេរញ្ជោ ព្រាហ្មណោ ភគវន្តំ ឯតទវោច សុតម្មេតំ ភោ គោតម ន សមណោ គោតមោ ព្រាហ្មណេ ជិណ្ណេ វុឌ្ឍេ[១] មហល្លកេ អទ្ធគតេ វយោ-អនុប្បត្តេ អភិវាទេតិ វា បច្ចុដ្ឋេតិ វា អាសនេន វា និមន្តេតីតិ តយិទំ ភោ គោតម តថេវ ន ហិ ភវំ គោតមោ ព្រាហ្មណេ ជិណ្ណេ វុឌ្ឍេ មហល្លកេ អទ្ធ-គតេ វយោអនុប្បត្តេ អភិវាទេតិ វា បច្ចុដ្ឋេតិ វា អាសនេន វា និមន្តេតិ តយិទំ ភោ គោតម ន សម្បន្នមេវាតិ ។ នាហន្តំ ព្រាហ្មណ បស្សាមិ សទេ-វកេ លោកេ សមារកេ សព្រហ្មកេ សស្សមណ-

១ ម. វុទ្ធេ



សំណាលទៅរកព្រះដ៏មានព្រះភាគ លុះបញ្ចប់ពាក្យ ដែលគួររីករាយ និងពាក្យដែលគួររលឹកលម្មឲ្យកើតសេចក្តីស្ងប់ស្ងាត់ហើយ ក៏អង្គុយក្នុងទីដ៏សមគួរ ។ លុះវេរញ្ជព្រាហ្មណ៍អង្គុយក្នុងទីដ៏សមគួរហើយ ក៏ពោលពាក្យនេះក្រាបទូលព្រះដ៏មានព្រះភាគថា បពិត្រព្រះគោតមដ៏ចំរើន ខ្ញុំបានឮពាក្យថា ព្រះសមណគោតម មិនសំពះ មិនក្រោកទទួលព្រាហ្មណ៍ទាំងឡាយដែលចាស់ព្រឹទ្ធា ជាព្រឹទ្ធាចារ្យ មានអាយុច្រើន រស់នៅបានយូរឆ្នាំមកហើយ មានអាយុកំដែលឈានមកក្នុងទីបំផុតហើយ ទោះបីគាត់នឹងអញ្ជើញទៅរកព្រាហ្មណ៍ទាំងនោះឲ្យគង់លើអាសនៈ (ព្រះអង្គក៏មិនធ្វើ) បពិត្រព្រះគោតមដ៏ចំរើន ពាក្យដែលខ្ញុំបានឮមកនោះ ជាប្រាកដថា ព្រះគោតមដ៏ចំរើន មិនសំពះ មិនក្រោកទទួលព្រាហ្មណ៍ទាំងឡាយដែលចាស់ព្រឹទ្ធា ជាព្រឹទ្ធាចារ្យ មានអាយុច្រើន រស់នៅយូរឆ្នាំមកហើយ មានអាយុកំដែលឈានមកក្នុងទីបំផុតហើយ ថា សូម្បីតែមិនអញ្ជើញទៅរកព្រាហ្មណ៍ទាំងនោះឲ្យគង់លើអាសនៈ (ព្រះអង្គក៏មិនធ្វើ) បពិត្រព្រះគោតមដ៏ចំរើន កិច្ចមិនសំពះជាដើមនោះ ជាទំនងមិនសមគួរសោះឡើយ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា ម្នាលព្រាហ្មណ៍ ក្នុងលោក (នេះ) ព្រមទាំងទេវលោក មារលោក ព្រហ្មលោក ក្នុងពពួកសត្វព្រមទាំងសមណៈ

ព្រាហ្មណិយា បជាយ សទេវមនុស្សាយ យមហំ អភិវាទេយ្យំ វា បច្ចុដ្ឋេយ្យំ វា អាសនេន វា និមន្តេយ្យំ វា ។ យំ ហិ ព្រាហ្មណ តថាគតោ អភិវាទេយ្យ វា បច្ចុដ្ឋេយ្យ វា អាសនេន វា និមន្តេយ្យ មុទ្ធាបិ តស្ស វិបតេយ្យាតិ ។ អរសរូបោ ភវំ គោតមោតិ ។ អត្ថិ ខ្វេស ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ អរសរូបោ សមណោ គោតមោតិ ។ យេ តេ ព្រាហ្មណ រូបរសា សទ្ទរសា គន្ធរសា រសរសា ផោដ្ឋព្វរសា តេ តថាគតស្ស បហីនា ឧច្ឆិន្នមូលា តាលាវត្ថុកតា អនភាវំ កតា(១) អាយតឹ អនុប្បាទធម្មា ។ អយំ ខោ ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ អរសរូបោ សមណោ គោតមោតិ

១ គតាតិបិ បាឋោ ។



និងព្រាហ្មណ៍ ទាំងមនុស្សជាសម្មតិទេព និងមនុស្សដ៏សេស តថាគតមិនឃើញអ្នកណាមួយ ដែលតថាគតគួរសំពះ ឬក្រោកទទួល ឬអញ្ជើញឲ្យអង្គុយលើអាសនៈនោះឡើយ ម្នាលព្រាហ្មណ៍ ព្រោះថា បើតថាគតសំពះអ្នកណា ឬក្រោកទទួលអ្នកណា ឬអញ្ជើញនូវអ្នកណាឲ្យអង្គុយលើអាសនៈ ក្បាលរបស់អ្នកនោះ នឹងដាច់ធ្លាក់ចេញចាកក ។ វេរញ្ជព្រាហ្មណ៍ ក៏ពោលពាក្យប្រទេចប្រទាះ ទៅកាន់ព្រះសាស្តាថា ព្រះគោតមដ៏ចំរើន ជាមនុស្សសោះកក្រោះ ឥតរសជាតិទេតើ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់តបថា ម្នាលព្រាហ្មណ៍ ពិតមែន មានហេតុជាទំនង គួរឲ្យអ្នកនិយាយថា ព្រះសមណគោតមជាមនុស្សសោះកក្រោះ ឥតរសជាតិ ដែលគេថានោះត្រូវហើយ ម្នាលព្រាហ្មណ៍ ពីព្រោះរសជាតិ គឺ រូប សំឡេង ក្លិន រសជាតិ សម្ផស្ស ទាំងប៉ុន្មាននោះ តថាគតបានលះស្រឡះហើយ បានផ្តាច់ផ្តិលឫសគល់អស់ហើយ បានធ្វើឲ្យហាប់កកើតទៀតឲ្យរស់ឡើងវិញដូចជាដើមត្នោតដែលគេកាប់ចាស់ហើយ ឲ្យលែងដុះទៅទៀតហើយ ជាធម៌លែងមានវិបាកតទៅទៀតហើយ ជាធម៌លែងមានកំណើតតទៅខាងមុខទៀតហើយ ម្នាលព្រាហ្មណ៍ ដែលអ្នកនិយាយថា ព្រះសមណគោតមជាមនុស្សសោះកក្រោះ ឥតរសជាតិនោះ គឺត្រូវត្រង់ហេតុនេះឯង

នោ ច ខោ យំ ត្វំ សន្ធាយ វទេសីតិ ។ និព្ភោគោ ភវំ គោតមោតិ ។ អត្ថិ ខ្វេស ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ និព្ភោគោ សមណោ គោតមោតិ យេ តេ ព្រាហ្មណ រូបភោគា សទ្ទភោគា គន្ធភោគា រសភោគា ផោដ្ឋព្វភោគា តេ តថាគតស្ស បហីនា ឧច្ឆិន្នមូលា តាលាវត្ថុកតា អនភាវំកតា អាយតឹ អនុប្បាទធម្មា អយំ ខោ ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ និព្ភោគោ សមណោ គោតមោតិ នោ ច ខោ យំ ត្វំ សន្ធាយ វទេសីតិ ។ អកិរិយវាទោ ភវំ គោតមោតិ ។



ប៉ុន្តែមិនមែនត្រូវត្រង់ហេតុ ដែលអ្នកឯងនិយាយសំដៅនោះទេ ។ ព្រាហ្មណ៍ពោលថា ព្រះគោតមដ៏ចំរើន គ្មានគ្រឿងបរិភោគទេតើ ។ ព្រះសម្មាសម្ពុទ្ធទ្រង់ត្រាស់តបថា ម្នាលព្រាហ្មណ៍ ពិតមែន មានហេតុជាចំនួន គួរឲ្យអ្នកផងគេថា ព្រះសមណគោតម ជាមនុស្សគ្មានគ្រឿងបរិភោគ ដែលគេថានោះត្រូវហើយ ម្នាលព្រាហ្មណ៍ គឺព្រោះគ្រឿងបរិភោគ គឺរូប សំឡេង ក្លិន រស សម្ផស្សទាំងប៉ុន្មាននោះ តថាគតបានលះស្រឡះហើយ បានផ្តាច់ផ្តិលឫសគល់អស់ហើយ បានធ្វើក្តុសម្រាប់កើតទៀតឲ្យអស់រលីង ដូចជាដើមត្នោត ដែលគេត្រលែងតាសំរលីង ឲ្យលែងដុះតទៅទៀតហើយ ជាធម៌លែងមានបែបភាគតទៅទៀតហើយ ជាធម៌មិនមានកំណើតតទៅខាងមុខទៀតទេ ម្នាលព្រាហ្មណ៍ ដែលអ្នកផងគេថា ព្រះសមណគោតម ជាមនុស្សគ្មានគ្រឿងបរិភោគនោះ គឺជាសំដីត្រូវត្រង់ហេតុនេះឯង ប៉ុន្តែមិនមែនត្រូវត្រង់ហេតុ ដែលអ្នកឯងនិយាយសំដៅនោះទេ ។ ព្រាហ្មណ៍ពោលថា ព្រះគោតមដ៏ចំរើន ជាអ្នកពោលពាក្យឃាត់កិច្ចការ ជាមិនត្រូវធ្វើទេតើ ។

អត្ថិ ខ្វេស ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ អកិរិយវាទោ សមណោ គោតមោតិ អហញ្ហិ ព្រាហ្មណ អកិរិយំ វទាមិ កាយទុច្ចរិតស្ស វចីទុច្ចរិតស្ស មនោទុច្ចរិតស្ស អនេកវិហិតានំ បាបកានំ អកុសលានំ ធម្មានំ អកិរិយំ វទាមិ អយំ ខោ ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ អកិរិយវាទោ សមណោ គោតមោតិ នោ ច ខោ យំ ត្វំ សន្ធាយ វទេសិ ។ ឧច្ឆេទវាទោ ភវំ គោតមោតិ ។ អត្ថិ ខ្វេស ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ ឧច្ឆេទវាទោ សមណោ គោតមោតិ អហញ្ហិ ព្រាហ្មណ ឧច្ឆេទំ វទាមិ រាគស្ស ទោសស្ស មោហស្ស អនេកវិហិតានំ បាបកានំ អកុសលានំ ធម្មានំ



ព្រះសាស្តាទ្រង់ត្រាស់តបថា ម្នាលព្រាហ្មណ៍ ពិតមែន មានហេតុជាទំនង គួរឲ្យអ្នកផងថា ព្រះសមណគោតម ជាអ្នកពោលពាក្យឃាត់កិច្ចការថា មិនត្រូវធ្វើ ដែលគេថានោះត្រូវហើយ ម្នាលព្រាហ្មណ៍ ព្រោះ តថាគតប្រកាន់និយាយហាមឃាត់ថា មិនត្រូវអ្នកណាមួយ ធ្វើកាយទុច្ចរិត វចីទុច្ចរិត មនោទុច្ចរិតឡើយ តថាគតតែងនិយាយហាមឃាត់ថា មិនត្រូវអ្នកណាមួយ ធ្វើនូវធម៌ទាំងឡាយជាអកុសលដ៏អាក្រក់ ច្រើនប្រការនោះឡើយ ម្នាលព្រាហ្មណ៍ ដែលអ្នកផងថា ព្រះសមណគោតម ជាអ្នកពោលពាក្យឃាត់កិច្ចការថា មិនត្រូវធ្វើនោះ គឺជាសំដីត្រូវត្រង់ហេតុនេះឯង ប៉ុន្តែមិនមែនត្រូវត្រង់ហេតុ ដែលអ្នកឯងនិយាយសំដៅនោះទេ ។ ព្រាហ្មណ៍ពោលថា ព្រះគោតមដ៏ចំរើន ជាអ្នកពោលពាក្យកាត់ផ្តាច់ផ្តិលទេឬ ។ ព្រះសាស្តាទ្រង់ត្រាស់តបថា ម្នាលព្រាហ្មណ៍ ពិតមែន មានហេតុជាទំនង គួរឲ្យអ្នកផងថា ព្រះសមណគោតម ជាអ្នកពោលពាក្យកាត់ផ្តាច់ផ្តិល ដែលគេថានោះត្រូវហើយ ម្នាលព្រាហ្មណ៍ ព្រោះ តថាគតប្រកាន់និយាយថា ឲ្យសត្វកាត់ផ្តាច់ផ្តិលនូវរាគៈ ទោសៈ មោហៈ តថាគតតែងនិយាយថា ឲ្យសត្វកាត់ផ្តាច់នូវបាបធម៌ទាំងឡាយ ជាអកុសលដ៏អាក្រក់ ច្រើនយ៉ាងនោះចេញ

ឧច្ឆេទំ វទាមិ អយំ ខោ ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ ឧច្ឆេទវាទោ សមណោ គោតមោតិ នោ ច ខោ យំ ត្វំ សន្ធាយ វទេសិ ។ ជេគុច្ឆី ភវំ គោតមោតិ ។ អត្ថិ ខ្វេស ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ ជេគុច្ឆី សមណោ គោតមោតិ អហញ្ហិ ព្រាហ្មណ ជិគុច្ឆាមិ(១) កាយទុច្ចរិតេន វចីទុច្ចរិតេន មនោទុច្ចរិតេន អនេកវិហិតានំ បាបកានំ អកុសលានំ ធម្មានំ សមាបត្តិយា ជិគុច្ឆាមិ(១) អយំ ខោ ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ ជេគុច្ឆី សមណោ គោតមោតិ នោ ច ខោ យំ ត្វំ សន្ធាយ វទេសិ ។ វេនយិកោ ភវំ គោតមោតិ ។ អត្ថិ ខ្វេស ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ វេនយិកោ សមណោ គោតមោតិ ។ អហញ្ហិ ព្រាហ្មណ វិនយាយ ធម្មំ ទេសេមិ រាគស្ស ទោសស្ស មោហស្ស

១ ឥមេសុ ទ្វីសុ ឋានេសុ ជេគុច្ឆំ វទាមីតិបិ បាឋោ ទិស្សតិ ។



ម្នាលព្រាហ្មណ៍ ដែលអ្នកផងគេថា ព្រះសមណគោតម ជាអ្នកពោលពាក្យផ្ដាច់ផ្ដិលនោះ គឺត្រូវត្រង់ហេតុនេះឯង ប៉ុន្តែមិនមែនត្រូវត្រង់ហេតុ ដែលអ្នកឯងនិយាយសំដៅនោះទេ ។ ព្រាហ្មណ៍ពោលថា ព្រះគោតមដ៏ចំរើន ជាអ្នកខ្ពើមរអើមណាស់ ទេតើ ។ ព្រះសម្ពុទ្ធទ្រង់ត្រាស់ថា ម្នាលព្រាហ្មណ៍ ពិតមែន មានហេតុជាទំនង គួរឲ្យអ្នកផងគេថា ព្រះសមណគោតម ជាអ្នកខ្ពើមរអើម ដែលគេថានោះត្រូវហើយ ម្នាលព្រាហ្មណ៍ ព្រោះតថាគតខ្ពើមសេចក្ដីប្រព្រឹត្តអាក្រក់ ដោយកាយវាចា ចិត្ត តថាគតខ្ពើមសេចក្ដីប្រកបចិត្តផ្គងផ្គិតទៅរកអកុសលធម៌ទាំងឡាយដ៏អាក្រក់ច្រើនប្រការ (ពេកណាស់) ម្នាលព្រាហ្មណ៍ ដែលអ្នកផងគេថា ព្រះសមណគោតម ជាអ្នកខ្ពើមរអើមនោះ គឺត្រូវត្រង់ហេតុនេះឯង ប៉ុន្តែមិនមែនត្រូវត្រង់ហេតុ ដែលអ្នកឯងនិយាយសំដៅនោះទេ ។ ព្រាហ្មណ៍ពោលថា ព្រះគោតមដ៏ចំរើន ជាអ្នកបំផ្លាញទេតើ ។ ព្រះលោកនាថជាម្ចាស់ទ្រង់ត្រាស់ថា ម្នាលព្រាហ្មណ៍ ពិតមែន មានហេតុជាទំនង គួរឲ្យអ្នកផងគេថា ព្រះសមណគោតម ជាអ្នកបំផ្លាញ ដែលគេថានោះត្រូវហើយ ម្នាលព្រាហ្មណ៍ ព្រោះ តថាគតសំដែងធម៌ដើម្បីកំចាត់បង់ ដែលបំផ្លាញបង់នូវរាគៈ ទោសៈ មោហៈ

តាលាវត្ថុកតា អនភាវង្កតា អាយតឹ អនុប្បាទធម្មា អយំ ខោ ព្រាហ្មណ បរិយាយោ យេន មំ បរិយាយេន សម្មា វទមានោ វទេយ្យ អរសរូបោ សមណោ គោតមោតិ នោ ច ខោ យំ ត្វំ សន្ធាយ វទេសីតិ ។

(៣) សេយ្យថាបិ ព្រាហ្មណ កុក្កុដិយា អណ្ឌានិ អដ្ឋ វា ទស វា ទ្វាទស វា តានស្សុ កុក្កុដិយា សម្មា អធិសយិតានិ សម្មា បរិសេទិតានិ សម្មា បរិភាវិតានិ យោ នុ ខោ តេសំ កុក្កុដច្ឆាបកានំ បឋមតរំ បាទនខសិខាយ វា មុខតុណ្ឌកេន វា អណ្ឌកោសំ បទាលេត្វា សោត្ថិនា អភិនិព្ភិជ្ជេយ្យ កិន្តិ ស្វាស្ស វចនីយោ ជេដ្ឋោ វា កនិដ្ឋោ វាតិ ។ ជេដ្ឋោតិស្ស ភោ គោតម វចនីយោ សោ ហិ នេសំ ជេដ្ឋោ ហោតីតិ ។ ឯវមេវ ខោ អហំ ព្រាហ្មណ អវិជ្ជាគតាយ បជាយ អណ្ឌភូតាយ បរិយោនទ្ធាយ



បានធ្វើទុកសម្រាប់កើតទៀត ឲ្យអស់រលីង ដូចជាដើមត្នោត ដែលគេក្រឡាប់គាស់រំលើង ឲ្យលែងដុះតទៅទៀតហើយ បានធ្វើឲ្យលែងមានបែបភាពតទៅទៀតហើយ ឲ្យជាធម៌លែងមានកំណើតតទៅខាងមុខទៀតហើយ ម្នាលព្រាហ្មណ៍ ដែលអ្នកជេរថា ព្រះសមណគោតម ជាមនុស្សឥតគំរើកនោះ ពិតត្រូវត្រង់ហេតុនេះឯង ប៉ុន្តែមិនមែនត្រូវត្រង់ហេតុ ដែលអ្នកឯងនិយាយសំដៅនោះទេ ។

(៣) ម្នាលព្រាហ្មណ៍ ប្រៀបដូចជាពងមាន់ទាំងឡាយ ៨ក្តី ១០ក្តី ១២ក្តី ពងមាន់ទាំងនោះ មេមាន់ក្រាបដោយប្រពៃហើយ ធ្វើឲ្យក្តៅដោយប្រពៃហើយ ឲ្យចាប់ក្លិនជាមេដោយប្រពៃហើយ (លុះដល់វេលាញាស់) ក្នុងពួកកូនមាន់ទាំងនោះ កូនមាន់ណា ទំលាយសម្បកពង ដោយចុងក្រចកជើង ឬដោយចុងចំពុះ ហើយញាស់ចេញមកដោយស្រួលមុនគេបំផុត តើដូចម្តេច អ្នកគប្បីហៅកូនមាន់នោះថា កូនច្បង ឬកូនពៅវិញ ។ ព្រាហ្មណ៍ក្រាបទូលថា បពិត្រព្រះគោតមដ៏ចំរើន (កូនមាន់នោះ) គេគួរហៅថា កូនច្បង ព្រោះវាជាច្បងគេបំផុត ។ ព្រះសាស្តាទ្រង់ត្រាស់ថា ម្នាលព្រាហ្មណ៍ កាលបើពពួកសត្វ ដូចជាពងមាន់ កើតហើយ មានអវិជ្ជាគឺសេចក្តីល្ងង់ ដូចជាសម្បកពងកំពុងរុំព័ទ្ធ

អវិជ្ជណ្ឌកោសំ បទាលេត្វា ឯកោ វ លោកេ អនុត្តរំ សម្មាសម្ពោធឹ អភិសម្ពុទ្ធោ សោហំ ព្រាហ្មណ ជេដ្ឋោ សេដ្ឋោ លោកស្ស អារទ្ធំ ខោ បន មេ ព្រាហ្មណ វីរិយំ អហោសិ អសល្លីនំ ឧបដ្ឋិតា សតិ អប្បមុដ្ឋា[១] បស្សទ្ធោ កាយោ អសារទ្ធោ សមាហិតំ ចិត្តំ ឯកគ្គំ សោ ខោ អហំ ព្រាហ្មណ វិវិច្ចេវ កាមេហិ វិវិច្ច អកុសលេហិ ធម្មេហិ សវិតក្កំ សវិចារំ វិវេកជំ បីតិសុខំ បឋមំ ឈានំ ឧបសម្បជ្ជ វិហាសឹ ។ វិតក្កវិចារានំ វូបសមា អជ្ឈត្តំ សម្បសាទនំ ចេតសោ ឯកោទិភាវំ អវិតក្កំ អវិចារំ សមាធិជំ បីតិសុខំ ទុតិយំ ឈានំ ឧបសម្បជ្ជ វិហាសឹ ។ បីតិយា ច វិរាគា ឧបេក្ខកោ ច វិហាសឹ សតោ ច សម្បជានោ សុខញ្ច កាយេន បដិសំវេទេសឹ យន្តំ អរិយា អាចិក្ខន្តិ ឧបេក្ខកោ

១ ឱ. ម. អសម្មុដ្ឋា ។



ក្នុងលោក មានតែតថាគតម្នាក់ឯង ដែលទំលាយសម្បកពងគឺសេចក្ដីល្ងង់ ហើយត្រាស់ដឹងខ្លួនឯង ដោយប្រពៃ នូវសម្មាសម្ពោធិញ្ញាណ ដែលមិនមានគុណជាតដទៃទៀត ប្រសើរជាងឡើយ ម្នាលព្រាហ្មណ៍ តថាគតឯងជាច្បង ជាបុគ្គលប្រសើរបំផុតជាងសព្វលោក ម្នាលព្រាហ្មណ៍ ព្យាយាមតថាគតបានកាន់រឿយៗហើយ មិនបន្ធូរបន្ថយទេ តាំងស្មារតី តថាគតក៏ប្រឹងមិនឲ្យមានភ្លេច កាយសោតក៏ស្ងប់ល្ហប់ មិនក្រវល់ក្រវាយ ចិត្តក៏នឹងល្អជាចិត្តមានអារម្មណ៍តែមួយ ម្នាលព្រាហ្មណ៍ តថាគតឯង លុះដល់ប្រាកដ ជាស្ងាត់ចាកកាមទាំងឡាយ ប្រាកដជាស្ងាត់ចាកធម៌ទាំងឡាយ ជាអកុសលហើយ ក៏ចូលដល់បឋមជ្ឈាន ដែលប្រកបដោយវិតក្កៈវិចារៈ មានបីតិនិងសុខ ដែលកើតអំពីសេចក្ដីស្ងប់ស្ងាត់ជាអារម្មណ៍នៅហើយ ។ លុះតថាគតចូលទៅជិតរម្ងាប់វិតក្កៈ វិចារៈ រួចហើយ ក៏បានចូលដល់ទុតិយជ្ឈាន ជាទីផូរផង់ប្រព្រឹត្តទៅខាងក្នុង មានសភាពជាចិត្តខ្ពស់ឯក គ្មានវិតក្កៈ វិចារៈ មានតែបីតិនិងសុខ កើតពីសមាធិនៅហើយ ។ លុះលះបង់បីតិចេញហើយ តថាគតជាបុគ្គលព្រងើយ មានសតិមានសេចក្ដីដឹងច្បាស់នៅហើយ តថាគតសោយសុខដោយកាយផង អរិយបុគ្គលទាំងឡាយ តែងសរសើរនូវបុគ្គល ដែលបានតតិយជ្ឈាននោះថា ជាបុគ្គលមានចិត្តព្រងើយ

សតិមា សុខវិហារីតិ តតិយំ ឈានំ ឧបសម្បជ្ជ វិហាសឹ ។ សុខស្ស ច បហានា ទុក្ខស្ស ច បហានា បុព្វេវ សោមនស្សទោមនស្សានំ អត្ថង្គមា អទុក្ខមសុខំ ឧបេក្ខាសតិបារិសុទ្ធឹ ចតុត្ថំ ឈានំ ឧបសម្បជ្ជ វិហាសឹ ។ សោ ឯវំ សមាហិតេ ចិត្តេ បរិសុទ្ធេ បរិយោទាតេ អនង្គណេ វិគតូបក្កិលេសេ មុទុភូតេ កម្មនិយេ ឋិតេ អានេញ្ជប្បត្តេ(១) បុព្វេនិវាសានុស្សតិញាណាយ ចិត្តំ អភិនិន្នាមេសឹ ។ សោ អនេកវិហិតំ បុព្វេនិវាសំ អនុស្សរាមិ ។ សេយ្យថីទំ ។ ឯកម្បិ ជាតឹ ទ្វេបិ ជាតិយោ តិស្សោបិ ជាតិយោ ចតស្សោបិ ជាតិយោ បញ្ចបិ ជាតិយោ ទសបិ ជាតិយោ វីសម្បិ ជាតិយោ តឹសម្បិ ជាតិយោ ចត្តាលីសម្បិ ជាតិយោ បញ្ញាសម្បិ ជាតិយោ ជាតិសតម្បិ ជាតិសហស្សម្បិ ជាតិសតសហស្សម្បិ អនេកេបិ សំវដ្ដកប្បេ អនេកេបិ វិវដ្ដកប្បេ អនេកេបិ សំវដ្ដវិវដ្ដកប្បេ អមុត្រាសឹ ឯវំនាមោ ឯវំគោត្តោ ឯវំវណ្ណោ ឯវមាហារោ ឯវំសុខទុក្ខប្បដិសំវេទី ឯវមាយុបរិយន្តោ សោ តតោ ចុតោ

១ ម. ឆ. អានេញ្ជប្បត្តេ ។



ជាអ្នកមានស្មារតី មានប្រក្រតីនៅជាសុខ ដូច្នេះ តថាគតក៏បានដល់នូវតតិយជ្ឈាននោះហើយនៅ ។ ព្រោះលះបង់នូវសេចក្តីសុខផង ព្រោះលះបង់នូវសេចក្តីទុក្ខផង ព្រោះរលត់នូវសោមនស្សនិងទោមនស្ស អំពីមុនផង តថាគតបានចូលដល់ចតុត្ថជ្ឈានឥតទុក្ខ ឥតសុខ មានសតិដ៏ស្អាតព្រោះឧបេក្ខាហើយនៅ ។ កាលដែលចិត្តតាំងខ្ជាប់ បរិសុទ្ធផូរផង់ មិនមានកិលេស ប្រាសចាកសេចក្តីសៅហ្មង ជាចិត្តទន់ សមគួរដល់កម្ម ជាចិត្តនឹងនួន មិនញាប់ញ័រ យ៉ាងនេះហើយ តថាគតឯង ក៏បានបង្អោនចិត្តចុះទៅ ក្នុងបុព្វេនិវាសានុស្សតិញ្ញាណ (ញាណជាគ្រឿងរលឹកជាតិមុនបាន) ។ តថាគតឯង ក៏រលឹកជាតិដែលបានអាស្រ័យនៅមកអំពីមុន ជាអនេកជាតិ ។ រលឹកជាតិបានដូចម្តេច ។ រលឹកបាន ១ ជាតិ ២ ជាតិ ៣ ជាតិ ៤ ជាតិ ៥ ជាតិ ១០ ជាតិ ២០ ជាតិ ៣០ ជាតិ ៤០ ជាតិ ៥០ ជាតិ ១០០ ជាតិ ១ ពាន់ជាតិ ១ សែនជាតិក៏បាន រលឹកបានច្រើនសំវដ្តកប្ប ច្រើនវិវដ្តកប្ប ច្រើនសំវដ្តវិវដ្តកប្បក៏បាន ដូច្នេះថា តថាគតបានកើតក្នុងភពឯណោះ មានឈ្មោះយ៉ាងនេះ មានគោត្រយ៉ាងនេះ មានសម្បុរយ៉ាងនេះ មានអាហារយ៉ាងនេះ ។ ទទួលសុខទុក្ខយ៉ាងនេះ មានកំណត់អាយុប៉ុណ្ណេះ តថាគតច្យុតចាកអត្តភាពនោះ

អមុត្រ ឧទបាទឹ តត្រាបាសឹ ឯវំនាមោ ឯវំគោត្តោ ឯវំ-
វណ្ណោ ឯវមាហារោ ឯវំសុខទុក្ខប្បដិសំវេទី ឯវមាយុបរិ-
យន្តោ សោ តតោ ចុតោ ឥធូបបន្នោតិ ។ ឥតិ សាការំ
សឧទ្ទេសំ អនេកវិហិតំ បុព្វេនិវាសំ អនុស្សរាមិ ។
អយំ ខោ មេ ព្រាហ្មណ រត្តិយា បឋមេ យាមេ
បឋមា វិជ្ជា អធិគតា អវិជ្ជា វិហតា វិជ្ជា ឧប្បន្នា
តមោ វិហតោ អាលោកោ ឧប្បន្នោ យថាតំ អប្ប-
មត្តស្ស អាតាបិនោ បហិតត្តស្ស វិហរតោ ។ អយំ
ខោ មេ ព្រាហ្មណ បឋមា អភិនិព្ភិទា អហោសិ
កុក្កុដច្ឆាបកស្សេវ អណ្ឌកោសម្ហា ។ សោ ឯវំ សមា-
ហិតេ ចិត្តេ បរិសុទ្ធេ បរិយោទាតេ អនង្គណេ វិគតូ-
បក្កិលេសេ មុទុភូតេ កម្មនិយេ ឋិតេ អានេញ្ជប្បត្តេ
សត្តានំ ចុតូបបាតញាណាយ ចិត្តំ អភិនិន្នាមេសឹ ។



ហើយបានទៅកើតក្នុងភពឯណោះ ដែលទៅកើតក្នុងភពនោះ តថាគត
ក៏មានឈ្មោះយ៉ាងនេះ មានគោត្រយ៉ាងនេះ មានសម្បុរយ៉ាងនេះ
មានអាហារយ៉ាងនេះ បានទទួលសុខទុក្ខយ៉ាងនេះ មានកំណត់
អាយុប៉ុណ្ណេះ តថាគតឯងច្យុតចាកអត្តភាពនោះហើយ មកកើតក្នុង
ភពនេះ ។ តថាគតរលឹកតាមនូវជាតិ ដែលអាស្រ័យនៅពីមុន បានច្រើន
ជាតិ ព្រមទាំងអាការៈព្រមទាំងឧទ្ទេសយ៉ាងនេះ ។ ម្នាលព្រាហ្មណ៍
បឋមវិជ្ជានេះហើយ ដែលតថាគតបានត្រាស់ដឹង ក្នុងយាមជាដំបូងនៃរាត្រី
លុះផុតសេចក្ដីល្ងង់ខ្លៅក៏បាត់ទៅ សេចក្ដីចេះដឹងច្បាស់ ក៏កើតឡើង
ងងឹតខ្ចាត់បាត់ទៅ ពន្លឺក៏កើតឡើងដល់តថាគត ដែលកំពុងអង្គុយប្រុង
ស្មារតី មិនប្រហែសធ្វេសប្រឹងដុតបំផ្លាញកិលេស មានចិត្តមូលស៊ប់ឥត
មានទំនាដល់កាយនិងជីវិតឡើយ ដូចជាបណ្ឌិតទាំងឡាយ ដែលបាន
នូវបឋមវិជ្ជានុ៎ះដូច្នោះដែរ ។ ម្នាលព្រាហ្មណ៍ នេះឯងជាបឋមវិជ្ជាដែល
តថាគតបានត្រាស់ដឹងហើយ ដូចជាកូនមាន់ញាស់ចេញចាកសម្បកពង ។
កាលដែលចិត្តខ្ជាប់ខ្ជួនបរិសុទ្ធផូរផង់ មិនមានកិលេស ប្រាសចាកសេចក្ដី
សៅហ្មង ជាចិត្តទន់សមគួរដល់កម្ម ជាចិត្តនឹងធឹងមិនញាប់ញ័រយ៉ាង
នេះហើយ តថាគតបង្អោនចិត្តទៅក្នុងញាណ ដែលនាំឲ្យបាន
ត្រាស់ដឹងនូវចុតិនិងបដិសន្ធិនៃសត្វទាំងឡាយ គឺចុតូបបាតញាណ ។

សោ ទិព្វេន ចក្ខុនា វិសុទ្ធេន អតិក្កន្តមានុសកេន សត្តេ បស្សាមិ ចវមានេ ឧបបជ្ជមានេ ហីនេ បណីតេ សុវណ្ណេ ទុព្វណ្ណេ សុគតេ ទុគ្គតេ យថាកម្មូបគេ សត្តេ បជានាមិ ឥមេ វត ភោន្តោ សត្តា កាយទុច្ចរិតេន សមន្នាគតា វចីទុច្ចរិតេន សមន្នាគតា មនោទុច្ចរិតេន សមន្នាគតា អរិយានំ ឧបវាទកា មិច្ឆាទិដ្ឋិកា មិច្ឆាទិដ្ឋិកម្មសមាទានា តេ កាយស្ស ភេទា បរំ មរណា អបាយំ ទុគ្គតឹ វិនិបាតំ និរយំ ឧបបន្នា ឥមេ វា បន ភោន្តោ សត្តា កាយសុចរិតេន សមន្នាគតា វចីសុចរិតេន សមន្នាគតា មនោសុចរិតេន សមន្នាគតា អរិយានំ អនុបវាទកា សម្មាទិដ្ឋិកា សម្មាទិដ្ឋិកម្មសមាទានា តេ កាយស្ស ភេទា បរំ មរណា សុគតឹ សគ្គំ លោកំ[១] ឧបបន្នាតិ ។ ឥតិ ទិព្វេន ចក្ខុនា វិសុទ្ធេន អតិក្កន្តមានុសកេន សត្តេ បស្សាមិ ចវមានេ ឧបបជ្ជមានេ ហីនេ បណីតេ

១ សគ្គលោកន្តិបិ បាឋោ ។



តថាគតពិចារណាមើលនូវសត្វទាំងឡាយ ដែលច្យុតនិងកាលបដិសន្ធិ ទាបថោកនិងឧត្តម មានសម្បុរល្អនិងអាក្រក់ ទៅកាន់សុគតិនិងទុគ្គតិ ដោយចក្ខុ ដូចជាទិព្វដ៏បរិសុទ្ធ ក្រៃលែងជាងចក្ខុរបស់មនុស្សសាមញ្ញ ក៏ឃើញច្បាស់នូវសត្វទាំងឡាយ ដែលអន្ទោលទៅតាមកម្មថា អើហ្ន៎ សត្វទាំងអម្បាលនេះ ប្រកបដោយកាយទុច្ចរិត ប្រកបដោយវចីទុច្ចរិត ប្រកបដោយមនោទុច្ចរិត ជាមិច្ឆាទិដ្ឋិ ប្រកាន់មាំនូវកម្ម ជាមិច្ឆាទិដ្ឋិ តិះដៀលអរិយបុគ្គលទាំងឡាយ សត្វទាំងនោះ លុះដល់រំលាយខន្ធ បន្ទាប់អំពីមរណៈ ក៏ទៅកើតឯអបាយ(១) ទុគ្គតិ(២) វិនិបាត(៣) នរក(៤) មួយទៀត អើហ្ន៎ សត្វទាំងអម្បាលនេះ ប្រកបដោយកាយសុចរិត ប្រកបដោយវចីសុចរិត ប្រកបដោយមនោសុចរិត ជាសម្មាទិដ្ឋិ ប្រកាន់មាំនូវកម្ម ជាសម្មាទិដ្ឋិ មិនតិះដៀលអរិយបុគ្គលទាំងឡាយ សត្វទាំងអម្បាលនោះ លុះដល់រំលាយខន្ធ បន្ទាប់អំពីមរណៈ ក៏ទៅកើតក្នុងលោកគឺសុគតិ(៥) និងស្ថានសួគ៌(៦) ។ តថាគតពិចារណាមើលនូវសត្វទាំងឡាយ ដែលច្យុតនិងកាលបដិសន្ធិ ទាបថោកនិងឧត្តម

១ កំណើតសត្វតិរច្ឆាន ។ ២ ប្រេតវិស័យ ។ ៣ អសុរកាយដែលមានយសហើយទ្រទ្រង់ខ្លួនពុំ [illegible] ។ ៤ លោកដែលប្រាសចាកសេចក្តីចំរើន [illegible] ។ ៥ ស្ថានប្រកបដោយគតិល្អ [illegible] ។ ៦ [illegible] ។

សុវណ្ណេ ទុព្វណ្ណេ សុគតេ ទុគ្គតេ យថាកម្មូបគេ សត្តេ បជានាមិ ។ អយំ ខោ មេ ព្រាហ្មណ រត្តិយា មជ្ឈិមេ យាមេ ទុតិយា វិជ្ជា អធិគតា អវិជ្ជា វិហតា វិជ្ជា ឧប្បន្នា តមោ វិហតោ អាលោកោ ឧប្បន្នោ យថាតំ អប្បមត្តស្ស អាតាបិនោ បហិតត្តស្ស វិហរតោ ។ អយំ ខោ មេ ព្រាហ្មណ ទុតិយា អភិនិព្ភិទា អហោសិ កុក្កុដច្ឆាបកស្សេវ អណ្ឌកោសម្ហា ។ សោ ឯវំ សមាហិតេ ចិត្តេ បរិសុទ្ធេ បរិយោទាតេ អនង្គណេ វិគតូបក្កិលេសេ មុទុភូតេ កម្មនិយេ ឋិតេ អានេញ្ជប្បត្តេ អាសវានំ ខយញាណាយ ចិត្តំ អភិនិន្នាមេសឹ សោ ឥទំ ទុក្ខន្តិ យថាភូតំ អព្ភញ្ញាសឹ អយំ ទុក្ខសមុទយោតិ យថាភូតំ អព្ភញ្ញាសឹ អយំ ទុក្ខនិរោធោតិ យថាភូតំ អព្ភញ្ញាសឹ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ អព្ភញ្ញាសឹ



បានសណ្ដានល្អនឹងអាក្រក់ ទៅកាន់សុគតិនិងទុគ្គតិ ដោយចក្ខុដូចជាទិព្វដ៏បរិសុទ្ធ កន្លងលើសចក្ខុរបស់មនុស្សសាមញ្ញ ក៏ឃើញច្បាស់នូវសត្វទាំងឡាយ ដែលអន្ទោលទៅតាមកម្ម ដោយប្រការដូច្នេះ ។ ម្នាលព្រាហ្មណ៍ វិជ្ជាទី ២ នេះឯងហើយ ដែលតថាគតបានត្រាស់ដឹងក្នុងយាមជាកណ្ដាលនៃរាត្រី លុះដល់សេចក្ដីល្ងង់ខ្ចាត់បាត់ទៅ សេចក្ដីចេះដឹងប្រាកដ ក៏កើតឡើង ងងឹតខ្ចាត់បាត់ទៅ ពន្លឺក៏កើតឡើងដល់តថាគតដែលកំពុងប្រឹងស្មារតី មិនប្រហែសធ្វេស ទំប្រឹងដុតបំផ្លាញកិលេស មានចិត្តមូលស៊ប់ឥតមានទីកទាដល់កាយនិងជីវិតឡើយ ដូចជាបណ្ឌិតទាំងឡាយដែលបាននូវវិជ្ជាទី ២ នុះដូច្នោះដែរ ។ ម្នាលព្រាហ្មណ៍ នេះឯងជាវិជ្ជាទី ២ ដែលតថាគតបានត្រាស់ដឹងហើយ ដូចជាកូនមាន់ដែលញាស់ចេញចាកសម្បកពង ។ កាលដែលចិត្តខ្ជាប់ខ្ជួន បរិសុទ្ធផូរផង់ មិនមានកិលេសប្រាសចាកសេចក្ដីសៅហ្មង ជាចិត្តទន់ សមគួរដល់កម្ម ជាចិត្តនឹងធឹងមិនញាប់ញ័រ យ៉ាងនេះហើយ តថាគតទើបបង្អោនចិត្តចំពោះទៅកាន់ញាណជាហេតុឲ្យបានអស់ទៅនៃអាសវៈទាំងឡាយ គឺអាសវក្ខយញ្ញាណ តថាគតក៏ដឹងច្បាស់តាមពិតថា នេះជាទុក្ខ ដឹងច្បាស់តាមពិតថា នេះជាហេតុនាំឲ្យកើតទុក្ខ ដឹងច្បាស់តាមពិតថា នេះជាសេចក្ដីរលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះជាបដិបទាឲ្យបានដល់នូវសេចក្ដីរលត់ទុក្ខ

សុវណ្ណេ ទុព្វណ្ណេ សុគតេ ទុគ្គតេ យថាកម្មូបគេ សត្តេ បជានាមិ ។ អយំ ខោ មេ ព្រាហ្មណ រត្តិយា មជ្ឈិមេ យាមេ ទុតិយា វិជ្ជា អធិគតា អវិជ្ជា វិហតា វិជ្ជា ឧប្បន្នា តមោ វិហតោ អាលោកោ ឧប្បន្នោ យថាតំ អប្បមត្តស្ស អាតាបិនោ បហិតត្តស្ស វិហរតោ ។ អយំ ខោ មេ ព្រាហ្មណ ទុតិយា អភិនិព្ភិទា អហោសិ កុក្កុដច្ឆាបកស្សេវ អណ្ឌកោសម្ហា ។ សោ ឯវំ សមាហិតេ ចិត្តេ បរិសុទ្ធេ បរិយោទាតេ អនង្គណេ វិគតូបក្កិលេសេ មុទុភូតេ កម្មនិយេ ឋិតេ អានេញ្ជប្បត្តេ អាសវានំ ខយញាណាយ ចិត្តំ អភិនិន្នាមេសឹ សោ ឥទំ ទុក្ខន្តិ យថាភូតំ អព្ភញ្ញាសឹ អយំ ទុក្ខសមុទយោតិ យថាភូតំ អព្ភញ្ញាសឹ អយំ ទុក្ខនិរោធោតិ យថាភូតំ អព្ភញ្ញាសឹ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ អព្ភញ្ញាសឹ



មានសណ្ឋានល្អនិងអាក្រក់ ទៅកាន់សុគតិនិងទុគ្គតិ ដោយចក្ខុដូចជាទិព្វដ៏បរិសុទ្ធ ក្រៃលែងជាងចក្ខុរបស់មនុស្សសាមញ្ញ ក៏ឃើញច្បាស់នូវសត្វទាំងឡាយ ដែលអន្ទោលទៅតាមកម្ម ដោយប្រការដូច្នេះ ។ ម្នាលព្រាហ្មណ៍ វិជ្ជាទី ២ នេះឯងហើយ ដែលតថាគតបានត្រាស់ដឹងក្នុងយាមជាកណ្ដាលនៃរាត្រី លុះដល់សេចក្ដីល្ងង់ខ្លៅបាត់ទៅ សេចក្ដីចេះដឹងច្បាស់ ក៏កើតឡើង ងងឹតខ្ចាត់បាត់ទៅ ពន្លឺក៏កើតឡើងដល់តថាគតដែលកំពុងប្រឹងស្មារតី មិនប្រហែសធ្វេស ទំរឹងដុតបំផ្លាញកិលេស មានចិត្តមូលស៊ប់ឥតមានទើសទាល់កាយនិងជីវិតឡើយ ដូចជាបណ្ឌិតទាំងឡាយដែលបានឃើញវិជ្ជាទី ២ នុះដូច្នោះដែរ ។ ម្នាលព្រាហ្មណ៍ នេះឯងជាវិជ្ជាទី ២ ដែលតថាគតបានត្រាស់ដឹងហើយ ដូចជាកូនមាន់ដែលញាស់ចេញចាកសម្បកពង ។ កាលដែលចិត្តខ្ជាប់ខ្ជួន បរិសុទ្ធផូរផង់ មិនមានកិលេស ប្រាសចាកសេចក្ដីសៅហ្មង ជាចិត្តទន់ សមគួរដល់កម្ម ជាចិត្តនឹងធឹង មិនញាប់ញ័រ យ៉ាងនេះហើយ តថាគតទើបបង្អោនចិត្តចំពោះទៅកាន់ញាណជាហេតុឲ្យបានអស់ទៅនៃអាសវៈទាំងឡាយ គឺអាសវក្ខយញ្ញាណ តថាគតក៏ដឹងច្បាស់តាមពិតថា នេះជាទុក្ខ ដឹងច្បាស់តាមពិតថា នេះជាហេតុនាំឲ្យកើតទុក្ខ ដឹងច្បាស់តាមពិតថា នេះជាសេចក្ដីរលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះជាបដិបទាឲ្យបានដល់នូវសេចក្ដីរលត់ទុក្ខ

ឥមេ អាសវាតិ យថាភូតំ អព្ភញ្ញាសឹ អយំ អាសវសមុទយោតិ យថាភូតំ អព្ភញ្ញាសឹ អយំ អាសវនិរោធោតិ យថាភូតំ អព្ភញ្ញាសឹ អយំ អាសវនិរោធគាមិនី បដិបទាតិ យថាភូតំ អព្ភញ្ញាសឹ តស្ស មេ ឯវំ ជានតោ ឯវំ បស្សតោ កាមាសវាបិ ចិត្តំ វិមុច្ចិត្ថ ភវាសវាបិ ចិត្តំ វិមុច្ចិត្ថ(១) អវិជ្ជាសវាបិ ចិត្តំ វិមុច្ចិត្ថ វិមុត្តស្មឹ វិមុត្តមិតិ(២) ញាណំ អហោសិ ខីណា ជាតិ វុសិតំ ព្រហ្មចរិយំ កតំ ករណីយំ នាបរំ ឥត្ថត្តាយាតិ អព្ភញ្ញាសឹ ។ អយំ ខោ មេ ព្រាហ្មណ រត្តិយា បច្ឆិមេ យាមេ តតិយា វិជ្ជា អធិគតា អវិជ្ជា វិហតា វិជ្ជា ឧប្បន្នា តមោ វិហតោ អាលោកោ ឧប្បន្នោ យថាតំ អប្បមត្តស្ស អាតាបិនោ បហិតត្តស្ស វិហរតោ ។ អយំ ខោ មេ ព្រាហ្មណ តតិយា អភិនិព្ភិទា អហោសិ កុក្កុដច្ឆាបកស្សេវ អណ្ឌកោសម្ហា ។

១ យុរោបបោត្ថកេ ឥតោ បរំ ទិដ្ឋាសវាបិ ចិត្តំ អត្ថិ ។ ២ វិមុត្តម្ហីតិបិ បាឋោ ។



ដឹងច្បាស់តាមពិតថា ធម៌ប៉ុណ្ណេះជាអាសវៈ ដឹងច្បាស់តាមពិតថា ធម៌នេះជាហេតុនាំឲ្យកើតអាសវៈ ដឹងច្បាស់តាមពិតថា នេះជាសេចក្ដីរលត់នៃអាសវៈ ដឹងច្បាស់តាមពិតថា នេះជាបដិបទាឲ្យបានដល់នូវសេចក្ដីរលត់នៃអាសវៈ កាលដែលតថាគតដឹងយ៉ាងនេះ តថាគតឃើញយ៉ាងនេះ ចិត្តតថាគតក៏ផុតចាកគ្រឿងត្រាំគឺកាមាសវៈ គឺភវាសវៈ គឺអវិជ្ជាសវៈ កាលបើចិត្តតថាគតបានរួចផុតស្រឡះហើយ ប្រាជ្ញាក៏កើតប្រាកដដល់តថាគតថា ចិត្តរួចផុតស្រឡះចាកអាសវៈហើយ តថាគតក៏ដឹងច្បាស់ថា កំណើតរបស់អាត្មាអស់ហើយ ព្រហ្មចរិយធម៌អាត្មាបានប្រព្រឹត្តរួចស្រេចហើយ សោឡសកិច្ច អាត្មាក៏បានធ្វើស្រេចហើយ កិច្ចដទៃដើម្បីសោឡសកិច្ចនេះទៀត មិនមានឡើយ ។ ម្នាលព្រាហ្មណ៍ វិជ្ជាទី ៣ នេះហើយ ដែលតថាគតបានត្រាស់ដឹងក្នុងយាមជាទីបំផុតនៃរាត្រី លុះដល់សេចក្ដីល្ងង់ខ្លៅខ្ចាត់បាត់ទៅ សេចក្ដីចេះដឹងច្បាស់ក៏កើតឡើង ងងឹតខ្ចាត់បាត់ទៅ ពន្លឺក៏កើតឡើងដល់តថាគតដែលកំពុងគង់នៅ ប្រើស្មារតីមិនប្រហែសធ្វេស ទំប្រឹងដុតបំផ្លាញកិលេស មានចិត្តមូលស្ទួនឥតមានចិត្តដល់កាយនិងជីវិតឡើយ ដូចជាបណ្ឌិតទាំងឡាយ ដែលបាននូវវិជ្ជាទី ៣ នុ៎ះដូច្នោះដែរ ។ ម្នាលព្រាហ្មណ៍ ការត្រាស់ដឹងរបស់តថាគតជាគំរប់ ៣ នេះ ដូចគ្នានឹងការញាស់ចេញរបស់កូនមាន់អំពីសម្បកពង ។

(៤) ឯវំ វុត្តេ វេរញ្ជោ ព្រាហ្មណោ ភគវន្តំ ឯតទវោច ជេដ្ឋោ ភវំ គោតមោ សេដ្ឋោ ភវំ គោតមោ អភិក្កន្តំ ភោ គោតម អភិក្កន្តំ ភោ គោតម សេយ្យថាបិ ភោ គោតម និក្កុជ្ជិតំ វា ឧក្កុជ្ជេយ្យ បដិច្ឆន្នំ វា វិវរេយ្យ មូឡ្ហស្ស វា មគ្គំ អាចិក្ខេយ្យ អន្ធការេ វា តេលបជ្ជោតំ ធារេយ្យ ចក្ខុមន្តោ រូបានិ ទក្ខន្តីតិ ឯវមេវំ(១) ភោតា គោតមេន អនេកបរិយាយេន ធម្មោ បកាសិតោ ឯសាហំ ភវន្តំ គោតមំ សរណំ គច្ឆាមិ ធម្មញ្ច ភិក្ខុសង្ឃញ្ច ឧបាសកំ មំ ភវំ គោតមោ ធារេតុ អជ្ជតគ្គេ បាណុបេតំ សរណំ គតំ អធិវាសេតុ ច មេ ភវំ គោតមោ វេរញ្ជាយំ វស្សាវាសំ សទ្ធិំ ភិក្ខុសង្ឃេនាតិ ។ អធិវាសេសិ ភគវា តុណ្ហីភាវេន ។

១ សព្វត្ថ ឯវមេវាតិ បាឋោ ទិស្សតិ ។



(៤) កាលបើព្រះដ៏មានព្រះភាគ ទ្រង់ត្រាស់យ៉ាងនេះហើយ វេរញ្ជព្រាហ្មណ៍ បានក្រាបបង្គំទូលព្រះដ៏មានព្រះភាគវិញថា ព្រះគោតមដ៏ចំរើន ព្រះអង្គជាចម្បងជាងមនុស្ស ប្រសើរបំផុតជាងមនុស្ស បពិត្រព្រះគោតមដ៏ចំរើន ភាសិតរបស់ព្រះអង្គច្បាស់ណាស់ បពិត្រព្រះគោតមដ៏ចំរើន ភាសិតរបស់ព្រះអង្គច្បាស់ណាស់ បពិត្រព្រះគោតមដ៏ចំរើន ធម៌ដែលព្រះអង្គសំដែងហើយ ដោយអនេកបរិយាយ យ៉ាងនេះ (ក៏ច្បាស់ណាស់) គួរជាដូចជាមនុស្សផ្ងាររបស់ដែលគេផ្កាប់ចុះឲ្យផ្ងារឡើង ពុំនោះ ដូចជាមនុស្សបើកបង្ហាញរបស់ដែលគេគ្របបាំង ពុំនោះសោត ដូចជាមនុស្សប្រាប់ផ្លូវដល់អ្នកវង្វេងទិស ឬក៏ដូចជាមនុស្សកាន់ប្រទីបព្រោលបំភ្លឺក្នុងទីងងឹត ដោយគិតថា មនុស្សមានភ្នែកនឹងមើលឃើញនូវរូបទាំងឡាយ ខ្ញុំព្រះអង្គនោះសូមដល់នូវព្រះគោតមដ៏ចំរើនផង ព្រះធម៌ផង ព្រះភិក្ខុសង្ឃផង ជាទីពឹងទីរលឹក តាំងពីថ្ងៃនេះទៅ សូមព្រះគោតមដ៏ចំរើនជ្រាបនូវខ្ញុំព្រះអង្គថាជាឧបាសកដល់សរណគមន៍ស្មើដោយជីវិត មិនតែប៉ុណ្ណោះទេ សូមព្រះគោតមដ៏ចំរើន ទទួលនិមន្តគង់ចាំវស្សាផងនៅស្រុកវេរញ្ជាមួយអន្លើដោយភិក្ខុសង្ឃ ។ ព្រះដ៏មានព្រះភាគក៏ព្រមទទួលនិមន្តដោយតុណ្ហីភាព (១) ។

១ ទទួលនិមន្តដោយស្ងៀម ។

ឧទុក្ខលេ កោដ្ដេត្វា កោដ្ដេត្វា បរិភុញ្ជន្តិ ។ អាយស្មា អានន្ទោ បត្ថបុលកំ សិលាយំ បីសិត្វា(១) ភគវតោ ឧបនាមេសិ ។ តំ ភគវា បរិភុញ្ជិ ។ អស្សោសិ ខោ ភគវា ឧទុក្ខលសទ្ទំ ។ ជានន្តាបិ តថាគតា បុច្ឆន្តិ ជានន្តាបិ ន បុច្ឆន្តិ កាលំ វិទិត្វា បុច្ឆន្តិ កាលំ វិទិត្វា ន បុច្ឆន្តិ អត្ថសញ្ហិតំ តថាគតា បុច្ឆន្តិ នោ អនត្ថសញ្ហិតំ អនត្ថសញ្ហិតេ សេតុឃាតោ តថាគតានំ ។ ទ្វីហាការេហិ ពុទ្ធា ភគវន្តោ ភិក្ខូ បដិបុច្ឆន្តិ ធម្មំ វា ទេសេស្សាម សាវកានំ វា សិក្ខាបទំ បញ្ញាបេស្សាមាតិ ។ អថខោ ភគវា អាយស្មន្តំ អានន្ទំ អាមន្តេសិ កិន្នុ ខោ សោ អានន្ទ ឧទុក្ខលសទ្ទោតិ ។ អថខោ អាយស្មា អានន្ទោ ភគវតោ ឯតមត្ថំ អារោចេសិ ។

១ ឱ. ម. បិសិត្វា ។



យកព្យាយគ្រៀមនោះបុកក្នុងត្បាល់ខ្ទេចខ្ទាំ ។ ចំណែកខាងព្រះអានន្ទដ៏មានអាយុ យកព្យាយគ្រៀម ១ នាឡិ កិនក្នុងត្បាល់ថ្មហើយយកទៅថ្វាយព្រះដ៏មានព្រះភាគ ។ ព្រះអង្គក៏ទ្រង់ទទួលសោយព្យាយគ្រៀមនោះ ។ វេលានោះ ព្រះសម្ពុទ្ធទ្រង់បានឮសូរត្បាល់ទីនៅទីនោះដែរ ។ ព្រះតថាគតទាំងឡាយ បានជ្រាបច្បាស់ហេតុហើយសួរក៏មាន បានជ្រាបហើយមិនសួរក៏មាន ជ្រាបច្បាស់នូវកាលគួរហើយសួរក៏មាន ជ្រាបច្បាស់នូវកាលគួរហើយមិនសួរក៏មាន ឯព្រះតថាគតទាំងឡាយ ព្រះអង្គតែងសួរនូវការណាដែលប្រកបដោយប្រយោជន៍ ការដែលមិនប្រកបដោយប្រយោជន៍ ព្រះអង្គមិនសួរឡើយ ព្រោះព្រះតថាគតទាំងឡាយ ទ្រង់បានផ្តាច់បង់នូវការមិនប្រកបដោយប្រយោជន៍ទាំងឡាយ ដោយអរិយមគ្គជ្រះស្រឡះហើយ ។ ព្រះសព្វញ្ញុពុទ្ធដ៏មានជោគទាំងឡាយ ទ្រង់តែងសួរនូវភិក្ខុទាំងឡាយ ដោយហេតុពីរប្រការ គឺ ទ្រង់សួរដើម្បីទ្រង់សំដែងនូវធម៌ ១ ដើម្បីនឹងបញ្ញត្តនូវសិក្ខាបទដល់សាវកទាំងឡាយ ១ ។ គ្រានោះ ព្រះដ៏មានព្រះភាគទ្រង់ហៅព្រះអានន្ទដ៏មានអាយុមក ហើយទ្រង់សួរថា ម្នាលអានន្ទ សូរសំឡេងនោះជាសូរត្បាល់អង្រែអ្វី ។ ទើបព្រះអានន្ទដ៏មានអាយុក្រាបទូលរឿងនុ៎ះឲ្យព្រះដ៏មានព្រះភាគជ្រាបគ្រប់ប្រការ ។

យេ ច តេ មោគ្គល្លាន បឋវិនិស្សិតា បាណា តេ កថំ ករិស្សសីតិ ។ ឯកាហំ ភន្តេ បាណឹ អភិនិម្មិនិស្សាមិ សេយ្យថាបិ មហាបឋវី យេ បឋវិនិស្សិតា បាណា តេ តត្ថ សង្កាមេស្សាមិ ឯកេន ហត្ថេន បឋវឹ បរិវត្តេស្សាមីតិ ។ អលំ មោគ្គល្លាន មា តេ រុច្ចិ បឋវឹ បរិវត្តេតុំ វិបល្លាសំបិ សត្តា បដិលភេយ្យុន្តិ ។ សាធុ ភន្តេ សព្វោ ភិក្ខុសង្ឃោ ឧត្តរកុរុំ បិណ្ឌាយ គច្ឆេយ្យាតិ ។ យេ បន តេ មោគ្គល្លាន ភិក្ខូ អនិទ្ធិមន្តោ តេ កថំ ករិស្សសីតិ ។ តថាហំ ភន្តេ ករិស្សាមិ យថា សព្វោ ភិក្ខុសង្ឃោ គមិស្សតីតិ ។ អលំ មោគ្គល្លាន មា តេ រុច្ចិ សព្វស្ស ភិក្ខុសង្ឃស្ស ឧត្តរកុរុំ បិណ្ឌាយ គមនន្តិ ។



ព្រះបរមសាស្តាទ្រង់ត្រាស់ថា ម្នាលមោគ្គល្លាន ចុះអ្នកនឹងយកមនុស្សសត្វទាំងឡាយដែលនៅអាស្រ័យលើផែនដីនេះ ឲ្យទៅទីណា ។ ព្រះមហាមោគ្គល្លានទូលតបថា សូមទ្រង់ព្រះមេត្តាប្រោស ខ្ញុំព្រះអង្គនឹងនិម្មិតបាតដៃម្ខាង ឲ្យបានដូចជាផែនដីធំ ទើបឲ្យសត្វទាំងឡាយដែលនៅអាស្រ័យលើផែនដី មកនៅលើបាតដៃម្ខាងនោះ ហើយខ្ញុំព្រះអង្គនឹងប្រែផ្លូវផែនដីដោយដៃម្ខាង ។ ព្រះអង្គទ្រង់ឃាត់ថា មោគ្គល្លាន អ្នកកុំពេញចិត្តនឹងត្រឡប់ផែនដីនោះឡើយ សត្វទាំងឡាយនឹងបានទទួលសេចក្តីច្រឡើមបល់ ។ ព្រះមហាមោគ្គល្លានក្រាបទូលថា សូមទ្រង់ព្រះមេត្តាប្រោស ព្រះពុទ្ធដីកាដែលទ្រង់ត្រាស់មកនោះប្រពៃហើយ (បើដូច្នោះ) សូមឲ្យភិក្ខុសង្ឃទាំងអស់ទៅបិណ្ឌបាតឯឧត្តរកុរុទ្វីបវិញ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់តបថា ម្នាលមោគ្គល្លាន ចុះភិក្ខុទាំងឡាយឯណាដែលមិនមានឫទ្ធិ អ្នកនឹងធ្វើឲ្យភិក្ខុទាំងនោះដូចម្តេចទៅ ។ ព្រះមហាមោគ្គល្លានក្រាបទូលថា សូមទ្រង់ព្រះមេត្តាប្រោស ភិក្ខុទាំងអស់នឹងទៅបានយ៉ាងណា ខ្ញុំព្រះអង្គនឹងធ្វើយ៉ាងនោះ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់តបថា កុំ មោគ្គល្លាន អ្នកកុំពេញចិត្តឲ្យភិក្ខុសង្ឃទាំងអស់ទៅបិណ្ឌបាតឯឧត្តរកុរុទ្វីបនោះឡើយ ។

(៧) អថ ខោ អាយស្មតោ សារីបុត្តស្ស រហោគតស្ស បដិសល្លីនស្ស ឯវំ ចេតសោ បរិវិតក្កោ ឧទបាទិ កតមេសានំ ខោ ពុទ្ធានំ ភគវន្តានំ ព្រហ្មចរិយំ ន ចិរដ្ឋិតិកំ អហោសិ កតមេសានំ ពុទ្ធានំ ភគវន្តានំ ព្រហ្មចរិយំ ចិរដ្ឋិតិកំ អហោសីតិ ។ អថ ខោ អាយស្មា សារីបុត្តោ សាយណ្ហសមយំ បដិសល្លានា វុដ្ឋិតោ យេន ភគវា តេនុបសង្កមិ ឧបសង្កមិត្វា ភគវន្តំ អភិវាទេត្វា ឯកមន្តំ និសីទិ ។ ឯកមន្តំ និសិន្នោ ខោ អាយស្មា សារីបុត្តោ ភគវន្តំ ឯតទវោច ឥធ មយ្ហំ ភន្តេ រហោគតស្ស បដិសល្លីនស្ស ឯវំ ចេតសោ បរិវិតក្កោ ឧទបាទិ កតមេសានំ ខោ ពុទ្ធានំ ភគវន្តានំ ព្រហ្មចរិយំ ន ចិរដ្ឋិតិកំ អហោសិ កតមេសានំ ពុទ្ធានំ ភគវន្តានំ ព្រហ្មចរិយំ ចិរដ្ឋិតិកំ អហោសីតិ ។ ភគវតោ ច សារីបុត្ត វិបស្សិស្ស ភគវតោ ច សិខិស្ស



(៧) គ្រានោះ ព្រះសារីបុត្តដ៏មានអាយុ លោកចូលទៅនៅក្នុងរហោឋានជាទីចេញចាកពួក ហើយសម្ងំនៅក្នុងកម្មដ្ឋាន បានសេចក្ដីត្រិះរិះយ៉ាងនេះថា ព្រហ្មចរិយធម៌(១) របស់ព្រះពុទ្ធដ៏មានជោគទាំងឡាយអង្គណាខ្លះហ្ន៎ ជាព្រហ្មចរិយធម៌មិនឋិតនៅយូរ ព្រហ្មចរិយធម៌របស់ព្រះពុទ្ធដ៏មានជោគទាំងឡាយអង្គណាខ្លះហ្ន៎ ជាព្រហ្មចរិយធម៌ឋិតនៅយូរ ។ គ្រានោះ ព្រះសារីបុត្តត្ថេរដ៏មានអាយុ ចេញចាកទីសម្ងំក្នុងវេលាសាយណ្ហសម័យ ហើយចូលទៅគាល់ព្រះដ៏មានព្រះភាគ លុះចូលទៅដល់បានក្រាបថ្វាយបង្គំព្រះអង្គដោយគោរព ហើយគង់ក្នុងទីដ៏សមគួរ ។ លុះព្រះសារីបុត្តដ៏មានអាយុគង់ក្នុងទីដ៏សមគួរហើយ ក៏ក្រាបទូលសួរចំពោះព្រះដ៏មានព្រះភាគថា សូមទ្រង់ព្រះមេត្តាប្រោស ខ្ញុំព្រះអង្គចូលទៅនៅក្នុងរហោឋានជាទីចេញចាកពួក ហើយសម្ងំនៅក្នុងកម្មដ្ឋាន មានសេចក្ដីត្រិះរិះថា ព្រហ្មចរិយធម៌របស់ព្រះពុទ្ធដ៏មានជោគទាំងឡាយអង្គណាខ្លះហ្ន៎ ជាព្រហ្មចរិយធម៌មិនឋិតនៅយូរ ព្រហ្មចរិយធម៌របស់ព្រះពុទ្ធដ៏មានជោគទាំងឡាយអង្គណាខ្លះហ្ន៎ ជាព្រហ្មចរិយធម៌ឋិតនៅយូរ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា ម្នាលសារីបុត្ត ព្រហ្មចរិយធម៌របស់ព្រះដ៏មានព្រះភាគព្រះនាមវិបស្សី ១ ព្រះដ៏មានព្រះភាគព្រះនាមសិខី ១

---

(១) ពាក្យប្រៀនប្រដៅរបស់ព្រះពុទ្ធជាម្ចាស់ ចំពោះត្រង់ត្រៃសិក្ខា គឺ សីល សមាធិ បញ្ញា ។

ភគវតោ ច វេស្សភុស្ស ព្រហ្មចរិយំ ន ចិរដ្ឋិតិកំ អហោសិ ភគវតោ ច សារីបុត្ត កកុសន្ធស្ស ភគវតោ ច កោណាគមនស្ស ភគវតោ ច កស្សបស្ស ព្រហ្មចរិយំ ចិរដ្ឋិតិកំ អហោសីតិ ។ កោ នុ ខោ ភន្តេ ហេតុ កោ បច្ចយោ យេន ភគវតោ ច វិបស្សិស្ស ភគវតោ ច សិខិស្ស ភគវតោ ច វេស្សភុស្ស ព្រហ្មចរិយំ ន ចិរដ្ឋិតិកំ អហោសីតិ ។ ភគវា ច សារីបុត្ត វិបស្សី ភគវា ច សិខី ភគវា ច វេស្សភូ កិលាសុនោ អហេសុំ សាវកានំ វិត្ថារេន ធម្មំ ទេសេតុំ អប្បកញ្ច នេសំ អហោសិ សុត្តំ គេយ្យំ វេយ្យាករណំ គាថា ឧទានំ ឥតិវុត្តកំ ជាតកំ អព្ភុតធម្មំ វេទល្លំ អប្បញ្ញត្តំ សាវកានំ សិក្ខាបទំ អនុទ្ទិដ្ឋំ បាតិមោក្ខំ តេសំ ពុទ្ធានំ ភគវន្តានំ អន្តរធានេន



ព្រះដ៏មានព្រះភាគព្រះនាមវេស្សភូ ១ ជាព្រហ្មចរិយធម៌មិនឋិតនៅយូរ ម្នាលសារីបុត្ត ឯព្រហ្មចរិយធម៌របស់ព្រះដ៏មានព្រះភាគព្រះនាមកកុសន្ធ ១ ព្រះដ៏មានព្រះភាគព្រះនាមកោនាគមន ១ ព្រះដ៏មានព្រះភាគព្រះនាមកស្សប ១ ជាព្រហ្មចរិយធម៌ឋិតនៅបានយូរ ។ ព្រះសារីបុត្តនោះក្រាបទូលសួរថា សូមទ្រង់ព្រះមេត្តាប្រោស ព្រហ្មចរិយធម៌របស់ព្រះដ៏មានព្រះភាគ ព្រះនាមវិបស្សី ១ ព្រះដ៏មានព្រះភាគព្រះនាមសិខី ១ ព្រះដ៏មានព្រះភាគព្រះនាមវេស្សភូ ១ បានជាមិនឋិតនៅយូរ នោះតើព្រោះហេតុនិងបច្ច័យដូចម្ដេច ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា ម្នាលសារីបុត្ត ព្រះដ៏មានព្រះភាគព្រះនាមវិបស្សី ១ ព្រះដ៏មានព្រះភាគព្រះនាមសិខី ១ ព្រះដ៏មានព្រះភាគព្រះនាមវេស្សភូ ១ ព្រះអង្គមិនសូវប្រឹងប្រែង[១]សំដែងធម៌ដល់សាវកទាំងឡាយដោយពិស្ដារប៉ុន្មានទេ ព្រហ្មចរិយធម៌មានអង្គ ៩ ប្រការ របស់ព្រះពុទ្ធទាំងឡាយនោះគឺ សុត្តៈ គេយ្យៈ វេយ្យាករណៈ គាថា ឧទានៈ ឥតិវុត្តកៈ ជាតកៈ អព្ភុតធម្មៈ វេទល្លៈ ជាធម៌មានចំនួនតិចៗណាស់ សិក្ខាបទក៏ព្រះពុទ្ធទាំងនោះមិនបានបញ្ញត្តដល់សាវកទាំងឡាយទេ ឯបាតិមោក្ខ ក៏ព្រះពុទ្ធទាំងនោះមិនបានសំដែងឡើយ ដល់កាលក៏ឥតព្រះពុទ្ធដ៏មានព្រះភាគ

---

១ ប្រែចេញពីពាក្យថា កិលាសុនោ សព្ទនេះប្រែថាខ្ជិល ប៉ុន្តែក្នុងទីនេះបើប្រែថាខ្ជិល នឹងទៅជាធ្ងន់សេចក្ដី មិនសមតាមន័យក្នុងអដ្ឋកថា ៗ ប្រាប់សេចក្ដីថា ព្រះពុទ្ធគ្មានសេចក្ដីខ្ជិលទេ ។

ពុទ្ធានុពុទ្ធានំ សាវកានំ អន្តរធានេន យេ តេ បច្ឆិមា សាវកា នានានាមា នានាគោត្តា នានាជច្ចា នានាកុលា បព្វជិតា តេ តំ ព្រហ្មចរិយំ ខិប្បញ្ញេវ អន្តរធាបេសុំ សេយ្យថាបិ សារីបុត្ត នានាបុប្ផានិ ផលកេ និក្ខិត្តានិ សុត្តេន អសង្គហិតានិ តានិ វាតោ វិកិរតិ វិធមតិ វិទ្ធំសេតិ តំ កិស្ស ហេតុ យថាតំ សុត្តេន អសង្គហិតត្តា ឯវមេវ ខោ សារីបុត្ត តេសំ ពុទ្ធានំ ភគវន្តានំ អន្តរធានេន ពុទ្ធានុពុទ្ធានំ សាវកានំ អន្តរធានេន យេ តេ បច្ឆិមា សាវកា នានានាមា នានាគោត្តា នានាជច្ចា នានាកុលា បព្វជិតា តេ តំ ព្រហ្មចរិយំ ខិប្បញ្ញេវ អន្តរធាបេសុំ អកិលាសុនោ ច តេ ពុទ្ធា[១] ភគវន្តោ អហេសុំ សាវកេ[២] ចេតសា ចេតោ បរិច្ច ឱវទិតុំ ភូតបុព្វំ សារីបុត្ត

១ ឱម ពាហៅ ពុទ្ធា ន ទិស្សតិ ។ ២ សាវកានន្តិ អត្ថិ ។



ទាំងឡាយនោះទៅ អំណើះតែពីសាវកទាំងឡាយជាអ្នកត្រាស់ដឹងតាមព្រះពុទ្ធនោះទៅ សាវកទាំងឡាយជាខាងក្រោយតមក ដែលមាននាមផ្សេង ៗ គ្នា មានគោត្តផ្សេង ៗ គ្នា មានជាតិផ្សេង ៗ គ្នា ចេញពីត្រកូលផ្សេង ៗ គ្នា ហើយបួសនោះ ក៏ញុំាងព្រហ្មចរិយធម៌នោះឲ្យសាបសូន្យបាត់អស់ឆាប់ទៅ ម្នាលសារីបុត្ត ឧបមាដូចជាផ្កាឈើផ្សេង ៗ ដែលគេមិនបានដោតក្រងបន្តដោយខ្សែហើយ គេដាក់លើបន្ទះក្តារ ខ្យល់ក៏រមែងរំបក់ផាត់កំចាត់កំចាយផ្កាទាំងនោះឲ្យវិនាសអស់ទៅ ខ្យល់ដែលធ្វើផ្កាទាំងនោះឲ្យវិនាសព្រោះហេតុអ្វី ពីព្រោះផ្កាទាំងនោះគេមិនបានដោតក្រងបន្តដោយខ្សែ ក៏សេចក្តីនេះយ៉ាងណាមិញ ម្នាលសារីបុត្ត លុះអំណើះតែពីព្រះសម្ពុទ្ធដ៏មានព្រះភាគ (ទាំង ៣ ព្រះអង្គ) នោះ ពីពួកសាវកដែលជាអ្នកត្រាស់ដឹងតាមព្រះពុទ្ធទាំងនោះទៅហើយ ពួកសាវកជាន់ក្រោយៗ តមក មាននាម គោត្ត ជាតិផ្សេង ៗ គ្នា ដែលចេញចាកត្រកូលផ្សេង ៗ គ្នា មកបួសនោះ ក៏ញុំាងព្រហ្មចរិយធម៌នោះឲ្យវិនាសទៅឆាប់ឆាយ ដូចជាផ្កាឥតក្រងយ៉ាងនោះឯង ម្យ៉ាងទៀត ព្រះពុទ្ធដ៏មានជោគទាំងនោះ លោកមិនស្អប់ប្រឹងប្រែងស្ទង់ចិត្ត (របស់សាវក) ដោយព្រះហឫទ័យ (របស់ព្រះអង្គ) ហើយទូន្មាននូវសាវកទាំងឡាយប៉ុន្មានឡើយ ម្នាលសារីបុត្ត

វេស្សភូ ភគវា អរហំ សម្មាសម្ពុទ្ធោ អញ្ញតរស្មឹ ភឹសនកេ វនសណ្ឌេ សហស្សំ ភិក្ខុសង្ឃំ ចេតសា ចេតោ បរិច្ច ឱវទតិ អនុសាសតិ ឯវំ វិតក្កេថ មា ឯវំ វិតក្កយិត្ថ ឯវំ មនសិករោថ មា ឯវំ មនសាកត្ថ ឥទំ បជហថ ឥទំ ឧបសម្បជ្ជ វិហរថាតិ អថខោ សារីបុត្ត តស្ស ភិក្ខុសហស្សស្ស[១] វេស្សភុនា ភគវតា អរហតា សម្មាសម្ពុទ្ធេន ឯវំ ឱវទិយមានានំ ឯវំ អនុសាសិយមានានំ អនុបាទាយ អាសវេហិ ចិត្តានិ វិមុច្ចឹសុ តត្រ សុទំ សារីបុត្ត ភឹសនកស្ស វនសណ្ឌស្ស ភឹសនកតស្មឹ ហោតិ យោ កោចិ អវីតរាគោ តំ វនសណ្ឌំ បវិសតិ យេភុយ្យេន[២] លោមានិ ហំសន្តិ អយំ ខោ សារីបុត្ត ហេតុ អយំ បច្ចយោ យេន ភគវតោ ច វិបស្សិស្ស ភគវតោ ច សិខិស្ស ភគវតោ ច វេស្សភុស្ស ព្រហ្មចរិយំ ន ចិរដ្ឋិតិកំ អហោសីតិ ។ កោ បន ភន្តេ ហេតុ កោ បច្ចយោ យេន ភគវតោ ច

១ តេសំ ភិក្ខូនន្តិ អត្ថោ ។ ២ ប. យេភុយ្យេន ។



តាំងពីដើមមកមានរឿងដំណាលថា ព្រះអរហំសម្មាសម្ពុទ្ធដ៏មានព្រះភាគទ្រង់ព្រះនាមវេស្សភូ ព្រះអង្គកំណត់នូវចិត្ត (របស់សាវក) ដោយព្រះហឫទ័យ (របស់ព្រះអង្គ) ហើយទ្រង់ទូន្មានប្រៀនប្រដៅភិក្ខុសង្ឃចំនួន ១ ពាន់រូប នៅក្នុងដងព្រៃមួយ ជាដងព្រៃគួរស្បើម ដោយពុទ្ធភាសិតថា អ្នកទាំងឡាយចូរត្រិះរិះយ៉ាងនេះ កុំត្រិះរិះយ៉ាងនេះឡើយ ចូរយកចិត្តទុកដាក់យ៉ាងនេះ កុំយកចិត្តទុកដាក់យ៉ាងនេះឡើយ ចូរលះបង់អំពើយ៉ាងនេះចេញ ហើយចូរផ្ដេកផ្ដួលចិត្តឲ្យប្រតិព្រឹត្តទៅតាមអំពើនេះវិញ ម្នាលសារីបុត្ត នៅវេលាដែលព្រះអរហំសម្មាសម្ពុទ្ធដ៏មានព្រះភាគទ្រង់ព្រះនាមវេស្សភូទ្រង់ទូន្មានប្រៀនប្រដៅយ៉ាងនេះៗហើយ ចិត្តរបស់ភិក្ខុទាំង ១ ពាន់រូបនោះ ក៏បានរួចស្រឡះចាកអាសវកិលេស មិនមានសេចក្ដីប្រកាន់មាំឡើយ ម្នាលសារីបុត្ត ដងព្រៃដែលមាននៅទីនោះគួរឲ្យស្បើមពេកណាស់ បើបុគ្គលណាមួយមិនទាន់ប្រាសចាករាគៈនៅឡើយទេ លុះបានចូលទៅកាន់ដងព្រៃនោះហើយ បុគ្គលនោះនឹងព្រឺរោមដោយច្រើន ម្នាលសារីបុត្ត ព្រហ្មចរិយធម៌របស់ព្រះដ៏មានព្រះភាគ ព្រះនាមវិបស្សី ១ ព្រះនាមសិខី ១ ព្រះនាមវេស្សភូ ១ ជាព្រហ្មចរិយធម៌មិនឋិតនៅយូរ ព្រោះហេតុនិងបច្ច័យប៉ុណ្ណោះឯង ។ ព្រះសារីបុត្តក្រាបទូលសួរតទៅទៀតថា សូមទ្រង់ព្រះមេត្តាប្រោស ព្រហ្មចរិយធម៌របស់ព្រះដ៏មានព្រះភាគ

ឯវមេវ ខោ សារីបុត្ត តេសំ ពុទ្ធានំ ភគវន្តានំ អន្តរធានេន ពុទ្ធានុពុទ្ធានំ សាវកានំ អន្តរធានេន យេ តេ បច្ឆិមា សាវកា នានានាមា នានាគោត្តា នានាជច្ចា នានាកុលា បព្វជិតា តេ តំ ព្រហ្មចរិយំ ចិរំ ទីឃមទ្ធានំ ឋបេសុំ អយំ ខោ សារីបុត្ត ហេតុ អយំ បច្ចយោ យេន ភគវតោ ច កកុសន្ធស្ស ភគវតោ ច កោណាគមនស្ស ភគវតោ ច កស្សបស្ស ព្រហ្មចរិយំ ចិរដ្ឋិតិកំ អហោសីតិ ។

(៨) អថខោ អាយស្មា សារីបុត្តោ ឧដ្ឋាយាសនា ឯកំសំ ឧត្តរាសង្គំ ករិត្វា យេន ភគវា តេនញ្ជលឹ បណាមេត្វា ភគវន្តំ ឯតទវោច ឯតស្ស ភគវា កាលោ ឯតស្ស សុគត កាលោ យំ ភគវា សាវកានំ សិក្ខាបទំ បញ្ញាបេយ្យ ឧទ្ទិសេយ្យ បាតិមោក្ខំ យថយិទំ[១] ព្រហ្មចរិយំ អទ្ធនិយំ អស្ស ចិរដ្ឋិតិកន្តិ ។ អាគមេហិ ត្វំ សារីបុត្ត

១ ម. យថយិទំ ។



ម្នាលសារីបុត្ត សេចក្តីឧបមេយ្យក៏ដូចគ្នាដែរ លុះព្រះពុទ្ធដ៏មានព្រះភាគទាំងអម្បាលនោះចូលនិព្វានទៅហើយ សាវកទាំងឡាយដែលត្រាស់ដឹងតាមព្រះពុទ្ធទាំងនោះក៏និព្វានទៅហើយដែរ សាវកទាំងឡាយជាខាងក្រោយដែលមានឈ្មោះផ្សេង ៗ គ្នា មានគោត្តផ្សេង ៗ គ្នា មានជាតិផ្សេង ៗ គ្នា ចេញចាកត្រកូលផ្សេង ៗ ហើយបួស ក៏ញុំាងព្រហ្មចរិយធម៌ (សាសនា) ឲ្យឋិតនៅជាអង្វែងមក ម្នាលសារីបុត្ត នេះឯងជាហេតុជាបច្ច័យ ញុំាងព្រហ្មចរិយធម៌ របស់ព្រះដ៏មានព្រះភាគទ្រង់ព្រះនាមកកុសន្ធៈ ព្រះដ៏មានព្រះភាគទ្រង់ព្រះនាមកោនាគមនៈ ព្រះដ៏មានព្រះភាគទ្រង់ព្រះនាមកស្សបៈ ឲ្យឋិតនៅបានយូរ ។

(៨) លំដាប់នោះ ព្រះសារីបុត្តដ៏មានអាយុក្រោកចាកអាសនៈហើយ ធ្វើសម្ពត់ឧត្តរាសង្គៈឆៀងស្មាម្ខាង ប្រណម្យអញ្ជលីចំពោះព្រះដ៏មានព្រះភាគ ហើយក្រាបទូលពាក្យនេះចំពោះព្រះដ៏មានព្រះភាគថា សូមទ្រង់ព្រះមេត្តាប្រោស កាលនេះជាកាលគួរហើយ បពិត្រព្រះសុគត កាលនេះជាកាលគួរដល់ព្រះដ៏មានព្រះភាគជាម្ចាស់ ។ គួរបញ្ញត្តសិក្ខាបទ គួរសំដែងបាតិមោក្ខដល់សាវកទាំងឡាយ ព្រោះកិច្ចដូច្នេះហើយជាហេតុដើម្បីព្រហ្មចរិយធម៌នេះឋិតនៅអស់កាលអង្វែងទៅ ។ ព្រះដ៏មានព្រះភាគជាម្ចាស់ទ្រង់ត្រាស់ថា ម្នាលសារីបុត្ត អ្នកចូររង់ចាំសិន ម្នាលសារីបុត្ត

សារីបុត្ត ឥធេកច្ចេ អាសវដ្ឋានិយា ធម្មា សង្ឃេ បាតុភវន្តិ យាវ ន សង្ឃោ វេបុល្លមហត្តំ បត្តោ ហោតិ យតោ ច ខោ សារីបុត្ត សង្ឃោ វេបុល្ល-មហត្តំ បត្តោ ហោតិ អថ ឥធេកច្ចេ អាសវដ្ឋានិយា ធម្មា សង្ឃេ បាតុភវន្តិ អថ សត្ថា សាវកានំ សិក្ខាបទំ បញ្ញាបេតិ ឧទ្ទិសតិ បាតិមោក្ខំ តេសញ្ញេវ អាសវដ្ឋានិយានំ ធម្មានំ បដិឃាតាយ ន តាវ សារីបុត្ត ឥធេកច្ចេ អាសវដ្ឋានិយា ធម្មា សង្ឃេ បាតុភវន្តិ យាវ ន សង្ឃោ លាភគ្គមហត្តំ បត្តោ ហោតិ យតោ ច ខោ សារីបុត្ត សង្ឃោ លាភគ្គមហត្តំ បត្តោ ហោតិ អថ ឥធេកច្ចេ អាសវដ្ឋានិយា ធម្មា សង្ឃេ បាតុភវន្តិ អថ សត្ថា សាវកានំ សិក្ខាបទំ បញ្ញា-បេតិ ឧទ្ទិសតិ បាតិមោក្ខំ តេសញ្ញេវ អាសវដ្ឋានិយានំ ធម្មានំ បដិឃាតាយ និរព្វុទោ ហិ សារីបុត្ត ភិក្ខុសង្ឃោ



ម្នាលសារីបុត្ត សង្ឃមិនទាន់បាននូវសេចក្ដីចំរើនមានគ្នាច្រើនត្រឹមណា ធម៌ទាំងឡាយខ្លះ ដែលជាទីតាំងនៃអាសវៈ ក៏មិនទាន់មានប្រាកដចំពោះសង្ឃក្នុងសាសនានេះត្រឹមនោះ ម្នាលសារីបុត្ត ម្យ៉ាងទៀត សង្ឃបានដល់នូវសេចក្ដីចំរើនមានគ្នាច្រើនក្នុងកាលណា ធម៌ទាំងឡាយខ្លះដែលជាទីតាំងនៃអាសវៈ ក៏មានប្រាកដចំពោះសង្ឃក្នុងសាសនានេះក្នុងកាលនោះ ទើបព្រះសាស្ដាបញ្ញត្តសិក្ខាបទ សំដែងនូវបាតិមោក្ខដល់សាវកទាំងឡាយ ដើម្បីការពារកាត់នូវធម៌ដែលជាទីតាំងនៃអាសវៈទាំងអម្បាលនោះ ក្នុងកាលនោះឯង ម្នាលសារីបុត្ត សង្ឃមិនទាន់ដល់នូវសេចក្ដីចំរើនដោយលាភសក្ការៈដ៏ប្រសើរត្រឹមណា ធម៌ទាំងឡាយខ្លះដែលជាទីតាំងនៃអាសវៈ ក៏នៅមិនទាន់មានប្រាកដចំពោះសង្ឃត្រឹមនោះ ម្នាលសារីបុត្ត លុះសង្ឃដល់នូវសេចក្ដីចំរើនដោយលាភសក្ការៈដ៏ប្រសើរក្នុងកាលណា ធម៌ទាំងឡាយខ្លះដែលជាទីតាំងនៃអាសវៈ ក៏មានប្រាកដចំពោះសង្ឃក្នុងកាលនោះដែរ ទើបព្រះសាស្ដាបញ្ញត្តសិក្ខាបទ សំដែងនូវបាតិមោក្ខដល់សាវកទាំងឡាយ ដើម្បីការពារកាត់នូវធម៌ដែលជាទីតាំងនៃអាសវៈទាំងអម្បាលនោះ ក្នុងកាលនោះឯង ម្នាលសារីបុត្ត ពីព្រោះ ( សព្វថ្ងៃ ) ភិក្ខុសង្ឃនៅមិនទាន់មានគុត ( ហាក់ដូចជាបូសគ្រក់ ) នៅឡើយ

និរព្វុទោ អបគតកាឡកោ សុទ្ធោ បរិយោទាតោ សារេ បតិដ្ឋិតោ ឥមេសំ ហិ សារិបុត្ត បញ្ចន្នំ ភិក្ខុសតានំ យោ បច្ឆិមកោ ភិក្ខុ សោ សោតាបន្នោ អវិនិបាតធម្មោ និយតោ សម្ពោធិបរាយណោតិ ។

(៩) អថខោ ភគវា អាយស្មន្តំ អានន្ទំ អាមន្តេសិ អាចិណ្ណំ ខោ បនេតំ អានន្ទ តថាគតានំ យេហិ និមន្តិតា វស្សំ វសន្តិ ន តេ អនបលោកេត្វា ជនបទចារិកំ បក្កមន្តិ អាយាមានន្ទ វេរញ្ជំ ព្រាហ្មណំ អបលោកេស្សាមាតិ ។ ឯវំ ភន្តេតិ ខោ អាយស្មា អានន្ទោ ភគវតោ បច្ចស្សោសិ ។ អថខោ ភគវា និវាសេត្វា បត្តចីវរមាទាយ



មិនដាច់មានទោសដោះដៃទៅឡើយ កំពុងនៅមានធម៌បរិសុទ្ធ ឥតមាន មានកណ្ដៀរទៅសៅហ្មង សុទ្ធសឹងតែស្រូវផ្ចិតផ្ចង់ចិត្តស្ងួត នៅក្នុងធម៌មានខ្លឹម ទៅឡើយ ម្នាលសារីបុត្ត ក៏បណ្ដាភិក្ខុទាំង ៥០០ រូប(១)នេះ ភិក្ខុដែលមានមគ្គផលយ៉ាងទាបបំផុតនោះ ក៏គង់បានសម្រេចត្រឹមថ្នាក់សោតៈ ជាបុគ្គលទៀងទាត់លែងធ្លាក់ទៅក្នុងអបាយភូមិហើយ ទើបបានត្រាស់ដឹងមគ្គផលតៗទៅទៀតជាប្រាកដ ។

(៩) (លុះផុតចេញវស្សាហើយ) ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ហៅព្រះអានន្ទដ៏មានអាយុមក ហើយមានព្រះបន្ទូលថា អានន្ទ ទំនៀមព្រះតថាគតទាំងឡាយ បើអ្នកណានិមន្តឲ្យនៅចាំវស្សាហើយ តែនៅមិនទាន់បានលាអ្នកនោះទេ ក៏មិនដែលចៀសចេញ (ពីទីនោះ) ទៅកាន់ជនបទចារិកឡើយ ចំពោះនេះជាទំនៀមរបស់ព្រះតថាគតទាំងឡាយ មក អានន្ទ យើងនឹងទៅលាវេរញ្ជព្រាហ្មណ៍ ។ ព្រះអានន្ទដ៏មានអាយុក៏ទទួលព្រះពុទ្ធដីកាថា សូមទ្រង់ព្រះមេត្តាប្រោស មែនយ៉ាងនេះហើយ ។ លំដាប់នោះ ព្រះភគព្រះអង្គទ្រង់ស្បង់ចីពរព្រមទាំងបាត្រស្រេចហើយ

១ ភិក្ខុទាំង ៥០០ រូប ដែលមកនៅចាំវស្សាជាមួយនឹងព្រះអង្គ គឺតក្រុងជាញ្ញាតនោះឯង ។

កាយស្សតា ភាជនេន បញ្ញាសមានេន យេន បញ្ចស្ស ព្រាហ្មណស្ស និវេសនំ តេនុបសង្កមិ ឧបសង្កមិត្វា បញ្ញត្តេ អាសនេ និសីទិ ។ អថ ខោ បញ្ចព្រាហ្មណោ យេន ភគវា តេនុបសង្កមិ ឧប- សង្កមិត្វា ភគវន្តំ អភិវាទេត្វា ឯកមន្តំ និសីទិ ។ ឯកមន្តំ និសិន្នំ ខោ បញ្ចំ ព្រាហ្មណំ ភគវា ឯតទវោច និមន្តិតម្ហា តយា ព្រាហ្មណ វស្សំ វុត្ថា អបលោ- កេម[1] តំ វិជ្ជាប មយំ ជនបទចារិកំ បក្កមិតុន្តិ ។ សច្ចំ ភោ គោតម និមន្តិតត្ថ មយា វស្សំ វុត្ថា អបិច យោ ទេយ្យធម្មោ សោ ច និប្ផន្នោ តញ្ច ខោ ពោ អសន្តំ ទោបិ អគារិកយោ តំ កុរុត្វ លព្ភា ពហុកិច្ចា ឃរាវាសា ពហុករណីយា អធិវាសេតុ មេ ភវំ គោតមោ ស្វាតនាយ ភត្តំ សទ្ធិំ ភិក្ខុ- សង្ឃេនាតិ ។ អធិវាសេសិ ភគវា តុណ្ហីភាវេន ។

---

១ ៤. ម. អបលោកេម ។



ទ្រង់យកព្រះភាជន៍ផងគេហៅជាបញ្ចាសមណៈ (ឲ្យធម្មតាមក្រោយព្រះ អង្គទៅ) ទ្រង់យាងទៅកាន់ផ្ទះរបស់បញ្ចព្រាហ្មណ៍ លុះចូល ទៅដល់ហើយ ក៏គង់លើអាសនៈដែលគេរៀបចំថ្វាយ ។ គ្រានោះ បញ្ច- ព្រាហ្មណ៍ ក៏ចូលមកគាល់ព្រះអង្គ លុះមកដល់ទីគាល់ហើយ ក៏ក្រាប ថ្វាយបង្គំព្រះអង្គដោយគោរព ហើយអង្គុយក្នុងទីដ៏សមគួរ ។ កាលបើ បញ្ចព្រាហ្មណ៍អង្គុយស្រួលបួលហើយ ក៏ព្រះដ៏មានព្រះភាគ មានព្រះ បន្ទូលថា ព្រាហ្មណ៍ អ្នកឯងបាននិមន្តយើងឲ្យនៅចាំវស្សា (វស្ស) ចេញវស្សាហើយ យើងត្រូវលាអ្នកនឹងចេញទៅកាន់ជនបទចារិក ។ បញ្ច- ព្រាហ្មណ៍ក៏ក្រាបទូលតបថា បពិត្រព្រះគោតមដ៏ចំរើន ពិតមែនហើយ ខ្ញុំព្រះអង្គបាននិមន្តសូមឲ្យព្រះអង្គគង់ចាំវស្សា តែថាទេយ្យធម៌ ដែល ខ្ញុំព្រះអង្គប្រុងនឹងថ្វាយនោះ ខ្ញុំព្រះអង្គមិនទាន់បានថ្វាយនៅឡើយ ។ ទេយ្យធម៌នោះមិនមែនជាគ្មានទេ ខ្ញុំព្រះអង្គនឹងបានប្រុងនឹងថ្វាយ នោះតែម្ដង (ប៉ុន្តែគ្រាន់តែមិនទាន់បានថ្វាយ) ព្រោះជាគិតជាគ្រហស្ថអ្នកគ្រប់ គ្រងផ្ទះសម្បែង រមែងមានកិច្ចរវល់ច្រើន មានការងារកើតច្រើន ចំណែក ខាងព្រះអង្គសោត ទ្រង់នឹងបានទេយ្យធម៌នោះមកពីណា សូមព្រះ គោតមដ៏ចំរើន ព្រមទាំងព្រះភិក្ខុសង្ឃទទួលចង្ហាន់របស់ខ្ញុំព្រះអង្គ ក្នុងថ្ងៃ ស្អែកផង ។ ព្រះដ៏មានព្រះភាគក៏ទ្រង់ទទួលនិមន្តដោយតុណ្ហីភាព ។

អថខោ ភគវា វេរញ្ជំ ព្រាហ្មណំ ធម្មិយា កថាយ សន្ទស្សេត្វា សមាទបេត្វា សមុត្តេជេត្វា សម្បហំសេត្វា ឧដ្ឋាយាសនា បក្កាមិ ។ អថខោ វេរញ្ជោ ព្រាហ្មណោ តស្សា រត្តិយា អច្ចយេន សកេ និវេសនេ បណីតំ ខាទនីយំ ភោជនីយំ បដិយាទាបេត្វា ភគវតោ កាលំ អារោចាបេសិ កាលោ ភោ គោតម និដ្ឋិតំ ភត្តន្តិ ។ អថខោ ភគវា បុព្វណ្ហសមយំ និវាសេត្វា បត្តចីវរមាទាយ យេន វេរញ្ជស្ស ព្រាហ្មណស្ស និវេសនំ តេនុបសង្កមិ ឧបសង្កមិត្វា បញ្ញត្តេ អាសនេ និសីទិ សទ្ធិំ ភិក្ខុសង្ឃេន ។ អថខោ វេរញ្ជោ ព្រាហ្មណោ ពុទ្ធប្បមុខំ ភិក្ខុសង្ឃំ បណីតេន ខាទនីយេន ភោជនីយេន សហត្ថា សន្តប្បេត្វា សម្បវារេត្វា ភគវន្តំ ភុត្តាវឹ ឱនីតបត្តបាណឹ តិចីវរេន អច្ឆាទេសិ



លំដាប់នោះ ព្រះដ៏មានព្រះភាគក៏ទ្រង់សំដែងធម៌ពន្យល់ណែនាំឲ្យវេរញ្ជព្រាហ្មណ៍យល់ប្រយោជន៍ គឺបច្ចុប្បន្ននិងបរលោក ឲ្យជឿជាក់គុណកុសលធម៌ ឲ្យកើតឧស្សាហ៍សន្សំធ្វើការកុសល រួចទ្រង់ក្រោកចាកអាសនៈ ហើយយាងត្រឡប់មកវិញ ។ ដល់វេលាព្រឹកឡើង វេរញ្ជព្រាហ្មណ៍ បង្គាប់ជនទាំងឡាយឲ្យតាក់តែងខាទនីយភោជនីយាហារ (បង្អែមនិងចំណាប) ដ៏ឆ្ងាញ់ពិសាក្នុងលំនៅរបស់ខ្លួនស្រេចហើយ ទើបចាត់បំរើឲ្យទៅក្រាបទូលព្រះដ៏មានព្រះភាគតាមកំណត់ពេលថា បពិត្រព្រះគោតមដ៏ចំរើន កាលនេះជាកាលគួរហើយ ចង្ហាន់ក៏បានរៀបចំស្រេចហើយ ។ លំដាប់នោះ ព្រះដ៏មានព្រះភាគព្រះអង្គទ្រង់ស្បង់ចីវរព្រមទាំងបាត្រ ហើយយាងចូលទៅកាន់លំនៅនៃវេរញ្ជព្រាហ្មណ៍ ជាមួយនឹងព្រះភិក្ខុសង្ឃក្នុងវេលាព្រឹកនោះ លុះដល់ហើយទ្រង់គង់លើអាសនៈដែលគេរៀបចំថ្វាយ ។ វេលានោះ វេរញ្ជព្រាហ្មណ៍ បានអង្គាសថ្វាយខាទនីយភោជនីយាហារ (បង្អែមនិងចំណាប) ដ៏ឆ្ងាញ់ពិសាដោយដៃខ្លួនឯង ចំពោះព្រះភិក្ខុសង្ឃមានព្រះពុទ្ធជាប្រធាន ឲ្យឆ្អែតស្កប់ស្កល់ត្រាតែដល់លោកប្រកែកលែងទទួលទៀត លុះព្រះដ៏មានជោគ ទ្រង់សោយស្រេច លែងលូកព្រះហស្តទៅក្នុងបាត្រហើយ ក៏ថ្វាយចីវរ ១ ត្រៃ

ឯកមេកញ្ច ភិក្ខុំ ឯកមេកេន ទុស្សយុគេន អច្ឆាទេសិ ។ អថខោ ភគវា វេរញ្ជំ ព្រាហ្មណំ ធម្មិយា កថាយ សន្ទស្សេត្វា សមាទបេត្វា សមុត្តេជេត្វា សម្បហំសេត្វា ឧដ្ឋាយាសនា បក្កាមិ ។ អថខោ ភគវា វេរញ្ជាយំ យថាភិរន្តំ វិហរិត្វា អនុបគម្ម សោរេយ្យំ សង្កស្សំ កណ្ណកុជ្ជំ យេន បយាគបតិដ្ឋានំ តេនុបសង្កមិ ឧបសង្កមិត្វា បយាគបតិដ្ឋានេ គង្គំ នទឹ ឧត្តរិត្វា យេន ពារាណសី តទវសរិ ។ អថខោ ភគវា ពារាណសិយំ យថាភិរន្តំ វិហរិត្វា យេន វេសាលី តេន ចារិកំ បក្កាមិ អនុបុព្វេន ចារិកំ ចរមានោ យេន វេសាលី តទវសរិ ។ តត្រ សុទំ ភគវា វេសាលិយំ វិហរតិ មហាវនេ កូដាគារសាលាយំ ។

វេរញ្ជភាណវារំ និដ្ឋិតំ ។



ហើយប្រគេនសម្ពត់ព្រះភិក្ខុសង្ឃ ១ គូ ១ រាល់អង្គ ។ លំដាប់នោះ ព្រះភគវាទ្រង់ត្រាស់សំដែងធម្មីកថាពន្យល់ឲ្យវេរញ្ជព្រាហ្មណ៍យល់ប្រយោជន៍ ក្នុងបច្ចុប្បន្ននិងបរលោក ឲ្យជឿជាក់ក្នុងកុសលធម៌ ឲ្យរីករាយនឹងហេតុសន្ទានធ្វើការកុសល រួចព្រះអង្គក្រោកចាកអាសនៈ ហើយទ្រង់យាងត្រឡប់មកវិញ ។ លុះព្រះអង្គគង់នៅនិគមវេរញ្ជាតាមគួរដល់អធ្យាស្រ័យហើយ ទ្រង់ក៏យាងចេញទៅកាន់នគរសោរេយ្យ រួចទៅនគរសង្កស្ស ហើយហួសទៅនគរកណ្ណកុជ្ជៈ (តពីនោះទៅ) ទ្រង់យាងសំដៅទៅស្រុកបយាគបតិដ្ឋាន លុះទៅដល់ហើយទ្រង់ឆ្លងស្ទឹងគង្គានទី ក្នុងស្រុកបយាគបតិដ្ឋាន ហើយយាងទៅដល់នគរពារាណសី ។ គ្រានោះ ព្រះអង្គគង់សំណាក់ក្នុងក្រុងពារាណសី ហើយទ្រង់ចៀសទៅកាន់ចារិកទៅក្រុងវេសាលី កាលទ្រង់យាងទៅកាន់ចារិកតាមលំដាប់ ក៏បានទៅដល់ក្រុងវេសាលី ។ បានឮថា ព្រះដ៏មានព្រះភាគព្រះអង្គទៅគង់សម្រាន្តឥរិយាបថ ក្នុងកូដាគារសាលាទៅនាមហាវន (ព្រៃធំ) ជិតក្រុងវេសាលីនោះ ។

ភាណវារៈដែលអំពីនិទានវេរញ្ជព្រាហ្មណ៍ ចប់ ។

## បារាជិកកណ្ឌេ បឋមសិក្ខាបទំ

(១០) តេន ខោ បន សមយេន វេសាលិយា អវិទូរេ កលន្ទគាមោ(១) ហោតិ ។ តត្ថ សុទិន្នោ នាម កលន្ទបុត្តោ(២) សេដ្ឋិបុត្តោ ហោតិ ។ អថខោ សុទិន្នោ កលន្ទបុត្តោ សម្ពហុលេហិ សហាយកេហិ សទ្ធឹ វេសាលឹ អគមាសិ កេនចិទេវ ករណីយេន ។ តេន ខោ បន សមយេន ភគវា មហតិយា បរិសាយ បរិវុតោ ធម្មំ ទេសេន្តោ និសិន្នោ ហោតិ ។ អទ្ទសា ខោ សុទិន្នោ កលន្ទបុត្តោ ភគវន្តំ មហតិយា បរិសាយ បរិវុតំ ធម្មំ ទេសេន្តំ និសិន្នំ ។ ទិស្វានស្ស ឯតទហោសិ យន្នូនាហម្បិ ធម្មំ សុណេយ្យន្តិ ។ អថខោ សុទិន្នោ កលន្ទបុត្តោ យេន សា បរិសា តេនុបសង្កមិ ឧបសង្កមិត្វា ឯកមន្តំ និសីទិ ។ ឯកមន្តំ និសិន្នស្ស ខោ សុទិន្នស្ស កលន្ទបុត្តស្ស ឯតទហោសិ យថា យថា ខោ អហំ ភគវតា ធម្មំ ទេសិតំ អាជានាមិ នយិទំ សុករំ អគារំ អជ្ឈាវសតា ឯកន្តបរិបុណ្ណំ ឯកន្តបរិសុទ្ធំ

១ ឱ, កលន្ទកគាមោ តាម ។ ម, កលន្ទគាមោ ។ ២ ឱ, កលន្ទកបុត្តោ ។

## បារាជិកកណ្ឌ សិក្ខាបទទី ១

(១០) ក្នុងសម័យនោះឯង មានស្រុកមួយឈ្មោះកលន្ទៈនៅមិនឆ្ងាយប៉ុន្មានអំពីក្រុងវេសាលី ។ ក្នុងស្រុកនោះ មានកូនសេដ្ឋីម្នាក់ឈ្មោះសុទិន្នកុមារជាបុត្ររបស់កលន្ទសេដ្ឋី ។ គ្រានោះ សុទិន្នកុមារកលន្ទបុត្រ ជាមួយនឹងសំឡាញ់ជាច្រើននាក់ នាំគ្នាទៅឯក្រុងវេសាលី ដោយមានកិច្ចការអ្វីមួយ ។ សម័យនោះឯង ព្រះដ៏មានព្រះភាគជាម្ចាស់មានពពួកបរិសទ្យច្រើនគាល់ព្រៀបត្រា ទ្រង់កំពុងគង់សំដែងធម៌ ។ សុទិន្នកលន្ទបុត្រ ក៏បានប្រទះឃើញព្រះអង្គមានបរិសទ្យច្រើនគាល់ព្រៀបត្រា កំពុងគង់សំដែងធម៌ ។ លុះឃើញហើយ សុទិន្នកុមារនោះក៏មានសេចក្តីត្រិះរិះថា អាត្មាអញគួរតែស្តាប់ធម៌សិន ។ គ្រានោះ សុទិន្នកលន្ទបុត្រក៏ចូលទៅកាន់ទីដែលបរិសទ្យអង្គុយនោះ លុះចូលទៅហើយបានអង្គុយនៅក្នុងទីមួយដ៏សមគួរ ។ កាលដែលសុទិន្នកុមារកលន្ទបុត្របានអង្គុយនៅក្នុងទីមួយដ៏សមគួរហើយ ក៏មានសេចក្តីត្រិះរិះថា ធម៌ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងហើយដោយបរិយាយណា ៗ អញក៏បានស្តាប់យល់តាមដំណើរទាំងនោះហើយ ប៉ុន្តែបើអញនៅជាគ្រហស្ថគ្រប់គ្រងផ្ទះ មិនងាយនឹងប្រព្រឹត្តព្រហ្មចរិយធម៌ ឲ្យបរិបូណ៌តែម្យ៉ាង ឲ្យបរិសុទ្ធតែម្យ៉ាង

សង្ខលិខិតំ ព្រហ្មចរិយំ ចរិតុំ យន្នូនាហំ កេស-
មស្សុំ ឱហារេត្វា កាសាយានិ វត្ថានិ អច្ឆាទេត្វា អគា-
រស្មា អនគារិយំ បព្វជេយ្យន្តិ ។ អថខោ សា បរិសា
ភគវតា ធម្មិយា កថាយ សន្ទស្សិតា សមាទបិតា
សមុត្តេជិតា សម្បហំសិតា ឧដ្ឋាយាសនា ភគវន្តំ
អភិវាទេត្វា បទក្ខិណំ កត្វា បក្កាមិ ។ អថខោ
សុទិន្នោ កលន្ទបុត្តោ អចិរវុដ្ឋិតាយ បរិសាយ យេន
ភគវា តេនុបសង្កមិ ឧបសង្កមិត្វា ភគវន្តំ អភិវាទេត្វា
ឯកមន្តំ និសីទិ ។ ឯកមន្តំ និសិន្នោ ខោ សុទិន្នោ
កលន្ទបុត្តោ ភគវន្តំ ឯតទវោច យថា យថាហំ ភន្តេ
ភគវតា ធម្មំ ទេសិតំ អាជានាមិ នយិទំ សុករំ អគារំ
អជ្ឈាវសតា ឯកន្តបរិបុណ្ណំ ឯកន្តបរិសុទ្ធំ សង្ខលិ-
ខិតំ ព្រហ្មចរិយំ ចរិតុំ ឥច្ឆាមហំ ភន្តេ កេសមស្សុំ
ឱហារេត្វា កាសាយានិ វត្ថានិ អច្ឆាទេត្វា អគារស្មា



ដូចជាស័ង្ខដែលគេខាត់ហើយនោះទេ បើដូច្នោះតែអញគួរកោរសក់និងពុកមាត់
ពុកចង្ការ ស្លៀកដណ្តប់សំពត់ដែលជ្រលក់អម្ចត់ ហើយចេញចាកផ្ទះទៅបួស
ប្រតិបត្តិក្នុងផ្នួស ដែលគ្មានប្រយោជន៍ ដោយកិច្ចការក្នុងផ្ទះ (គឺនឹងបាន
ប្រព្រឹត្តព្រហ្មចរិយធម៌កើត) ។ គ្រានោះ ពួកពុទ្ធបរិស័ទបានស្តាប់ធម្មី-
កថាដែលព្រះដ៏មានព្រះភាគ ទ្រង់ណែនាំឲ្យយល់ច្បាស់ជាក់ស្រួលបបួល
ឲ្យកាន់យកល្អហើយ ក៏ក្រោកចាកទីអង្គុយ ក្រាបថ្វាយបង្គំព្រះអង្គ
រួចដើរប្រទក្សិណហើយក៏ចេញទៅវិញទៅ ។ ឯសុទិន្នកលន្ទបុត្រ កាលបើ
ពួកពុទ្ធបរិស័ទក្រោកទៅអស់ហើយភ្លាម ក៏ចូលទៅគាល់ព្រះដ៏មានព្រះ-
ភាគ ក្រាបថ្វាយបង្គំព្រះអង្គដោយគោរព រួចអង្គុយក្នុងទីសមគួរ ។
លុះសុទិន្នកលន្ទបុត្រ អង្គុយនៅក្នុងទីសមគួរហើយ ក៏ក្រាបទូល
ព្រះអង្គថា សូមទ្រង់ព្រះមេត្តាប្រោស ធម៌ដែលព្រះអង្គសំដែងហើយ
ដោយប្រការណាៗ ខ្ញុំព្រះអង្គបានយល់តាមដំណើរទាំងនោះដែរ
ហើយ ប៉ុន្តែខ្ញុំព្រះអង្គនៅជាគ្រហស្ថគ្រប់គ្រងផ្ទះ (យ៉ាងនេះ) គឺមិន
ងាយនឹងប្រព្រឹត្តព្រហ្មចរិយធម៌ ឲ្យបរិបូណ៌តែម្យ៉ាង ឲ្យបរិសុទ្ធតែម្យ៉ាង
ដូចជាស័ង្ខដែលគេខាត់ហើយនោះទេ សូមតាទខ្ញុំព្រះអង្គចង់កោរសក់និង
ពុកមាត់ពុកចង្កា ស្លៀកដណ្តប់សំពត់ដែលជ្រលក់អម្ចត់ហើយចេញចាកផ្ទះ

ឥច្ឆាមហំ កេសមស្សុំ ឱហារេត្វា កាសាយានិ វត្ថានិ អច្ឆាទេត្វា អគារស្មា អនគារិយំ បព្វជិតុំ អនុជានាថ មំ អគារស្មា អនគារិយំ បព្វជ្ជាយាតិ ។ ឯវំ វុត្តេ សុទិន្នស្ស កលន្ទបុត្តស្ស មាតាបិតរោ សុទិន្នំ កលន្ទបុត្តំ ឯតទវោចុំ ត្វំ ខោសិ តាត សុទិន្ន អម្ហាកំ ឯកបុត្តកោ បិយោ មនាបោ សុខេធិតោ សុខបរិហតោ ន ត្វំ តាត សុទិន្ន កិញ្ចិ ទុក្ខស្ស ជានាសិ មរណេនបិ មយន្តេ អកាមកា វិនា ភវិស្សាម កឹ បន មយំ តំ ជីវន្តំ អនុជានិស្សាម អគារស្មា អនគារិយំ បព្វជ្ជា-យាតិ ។ ទុតិយម្បិ ខោ សុទិន្នោ កលន្ទបុត្តោ មាតាបិតរោ ឯតទវោច អម្ម តាត យថា យថាហំ ភគវតា ធម្មំ ទេសិតំ អាជានាមិ នយិទំ សុករំ អគារំ អជ្ឈាវសតា ឯកន្តបរិបុណ្ណំ ឯកន្តបរិសុទ្ធំ សង្ខលិខិតំ ព្រហ្មចរិយំ ចរិតុំ ឥច្ឆាមហំ កេស-មស្សុំ ឱហារេត្វា កាសាយានិ វត្ថានិ អច្ឆាទេត្វា



ឲ្យបរិបូណ៌តែម្យ៉ាង ឲ្យបរិសុទ្ធតែម្យ៉ាង ដូចជាស័ង្ខដែលគេខាត់ហើយនោះទេ ខ្ញុំបាទចង់កោរសក់និងពុកមាត់ពុកចង្កា ស្លៀកដណ្តប់សំពត់ដែលជ្រលក់អម្ចត់ ហើយចេញចាកផ្ទះ ទៅបួសប្រតិបត្តិក្នុងភេទដែលគ្មានប្រយោជន៍ដោយកិច្ចការក្នុងផ្ទះ (នោះណាស់) សូមអ្នកម្តាយអ្នកឪពុកអនុញ្ញាតឲ្យខ្ញុំបាទចេញចាកផ្ទះទៅបួសក្នុងព្រះពុទ្ធសាសនាឲ្យបាន ។ មាតាបិតារបស់សុទិន្នកលន្ទបុត្រ កាលបើបានឮកូនលាដូច្នេះហើយ ក៏និយាយឃាត់ថា ម្នាលសុទិន្នកូន បាឯងជាបុត្រឯករបស់យើង ជាទីស្រឡាញ់គាប់ចិត្តរបស់យើង ធ្លាប់បីតែនៅក្នុងសេចក្តីសុខ មានអ្នកទំនុកបំរុងឲ្យបានសេចក្តីសុខ នែសុទិន្នកូន បាឯងមិនដែលស្គាល់ទុក្ខបន្តិចបន្តួចសោះឡើយ ទោះបីបាឯងស្លាប់ក្តី យើងក៏មិនចង់ព្រាត់ប្រាសចាកបាឯងទេ យើងនឹងអនុញ្ញាតបាកំពុងរស់នៅឲ្យចេញចាកផ្ទះទៅបួសក្នុងព្រះពុទ្ធសាសនាម្តេចបាន ។ ទើបសុទិន្នកលន្ទបុត្រនិយាយពាក្យនេះនឹងមាតាបិតាជាគំរប់ពីរដងថា បពិត្រមាតាបិតា ធម៌ដែលព្រះដ៏មានព្រះភាគសំដែងហើយដោយដំណើរយ៉ាងណា ៗ ខ្ញុំបាទយល់តាមដំណើរទាំងនោះដែរហើយ ប៉ុន្តែបើខ្ញុំនៅជាគ្រហស្ថគ្រប់គ្រងផ្ទះ (យ៉ាងនេះ) ក៏មិនងាយនឹងប្រព្រឹត្តព្រហ្ម-ចរិយធម៌ឲ្យបរិបូណ៌តែម្យ៉ាង ឲ្យបរិសុទ្ធតែម្យ៉ាង ដូចជាស័ង្ខដែលគេខាត់ហើយនោះទេ ខ្ញុំចង់កោរសក់និងពុកមាត់ពុកចង្កា ស្លៀកដណ្តប់សំពត់

អគារស្មា អនគារិយំ បព្វជិតុំ អនុជានាថ មំ អគារស្មា អនគារិយំ បព្វជ្ជាយាតិ ។ ទុតិយម្បិ ខោ សុទិន្នស្ស កលន្ទបុត្តស្ស មាតាបិតរោ សុទិន្នំ កលន្ទបុត្តំ ឯតទវោចុំ ត្វំ ខោសិ តាត សុទិន្ន អម្ហាកំ ឯកបុត្តកោ បិយោ មនាបោ សុខេធិតោ សុខបរិហតោ ន ត្វំ តាត សុទិន្ន កិញ្ចិ ទុក្ខស្ស ជានាសិ មរណេនបិ មយន្តេ អកាមកា វិនា ភវិស្សាម កឹ បន មយំ តំ ជីវន្តំ អនុជានិស្សាម អគារស្មា អនគារិយំ បព្វជ្ជាយាតិ ។ ទុតិយម្បិ ខោ សុទិន្នោ កលន្ទបុត្តោ មាតាបិតរោ ឯតទវោច អម្ម តាត យថា យថាហំ ភគវតា ធម្មំ ទេសិតំ អាជានាមិ នយិទំ សុករំ អគារំ អជ្ឈាវសតា ឯកន្តបរិបុណ្ណំ ឯកន្តបរិសុទ្ធំ សង្ខលិខិតំ ព្រហ្មចរិយំ ចរិតុំ ឥច្ឆាមហំ កេសមស្សុំ ឱហារេត្វា កាសាយានិ វត្ថានិ អច្ឆាទេត្វា អគារស្មា អនគារិយំ បព្វជិតុំ អនុជានាថ មំ អគារស្មា អនគារិយំ បព្វជ្ជាយាតិ ។ តតិយម្បិ ខោ សុទិន្នស្ស កលន្ទបុត្តស្ស មាតាបិតរោ សុទិន្នំ កលន្ទបុត្តំ ឯតទវោចុំ



ជ្រលក់អម្ចត់ ហើយចេញចាកផ្ទះមកបួសក្នុងព្រះពុទ្ធសាសនា សូមមាតា-បិតាអនុញ្ញាតឲ្យខ្ញុំចេញចាកផ្ទះ ទៅបួសក្នុងព្រះពុទ្ធសាសនាចុះ ។ មាតាបិតារបស់សុទិន្នកលន្ទបុត្រ ក៏បាននិយាយនឹងសុទិន្នកលន្ទបុត្រជាគំរប់ពីរដងដូច្នេះថា នែសុទិន្នកូន ប្អូនឯងជាបុត្រតែមួយ ជាទីស្រឡាញ់ពេញចិត្តរបស់យើង (ប្អូនឯង) ធ្លាប់តែនៅក្នុងសេចក្ដីសុខ មានគេបីបាច់ឲ្យបានសេចក្ដីសុខ នែប្អូនសុទិន្ន ប្អូនមិនធ្លាប់ស្គាល់សេចក្ដីទុក្ខបន្តិចបន្តួចសោះ ទោះបីស្លាប់ប្អូនឯងក្ដី យើងមិនចង់ព្រាត់ប្រាសចាកប្អូនទេ យើងនឹងអនុញ្ញាតឲ្យប្អូនកំពុងរស់នៅឲ្យចេញចាកផ្ទះទៅបួសក្នុងព្រះពុទ្ធសាសនាដូចម្ដេចបាន ។ សុទិន្នកលន្ទបុត្រ បាននិយាយពាក្យនេះនឹងមាតាបិតាជាគំរប់ពីរដងថា បពិត្រមាតាបិតា ខ្ញុំដឹងច្បាស់នូវធម៌ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងដោយអាការយ៉ាងណាៗ ជនណា អ្នកនៅតែក្នុងផ្ទះ មិនប្រ-ព្រឹត្តព្រហ្មចរិយធម៌ឲ្យបរិបូណ៌តែម្យ៉ាង ឲ្យបរិសុទ្ធតែម្យ៉ាង ដូចជាស័ង្ខដែលបុគ្គលដុសខាត់ហើយ មិនងាយឡើយ ខ្ញុំប្រាថ្នាដើម្បីកោរសក់និងពុកមាត់ហើយស្លៀកដណ្ដប់សំពត់កាសាវៈ ហើយចេញចាកផ្ទះទៅបួសជាបុគ្គលមិនត្រូវការដោយផ្ទះ ហេតុនេះសូមមាតាបិតាអនុញ្ញាតខ្ញុំឲ្យចេញចាកផ្ទះទៅបួស ជាបុគ្គលមិនត្រូវការដោយផ្ទះវិញចុះ ។ មាតាបិតារបស់សុ-ទិន្នកលន្ទបុត្រ បាននិយាយពាក្យនេះនឹងសុទិន្នកលន្ទបុត្រជាគំរប់បីដងថា

ត្វំ ខោសិ តាត សុទិន្ន អម្ហាកំ ឯកបុត្តកោ បិយោ មនាបោ សុខេធិតោ សុខបរិហតោ ន ត្វំ តាត សុទិន្ន កិញ្ចិ ទុក្ខស្ស ជានាសិ មរណេនបិ មយន្តេ អកាមកា វិនា ភវិស្សាម កឹ បន មយំ តំ ជីវន្តំ អនុជានិស្សាម អគារស្មា អនគារិយំ បព្វជ្ជាយាតិ ។ អថខោ សុទិន្នោ កលន្ទបុត្តោ ន មំ មាតាបិតរោ អនុជានន្តិ អគារស្មា អនគារិយំ បព្វជ្ជាយាតិ តត្ថេវ អនន្តរហិតាយ ភូមិយា និបជ្ជិ ឥធេវ មេ មរណំ ភវិស្សតិ បព្វជ្ជា វាតិ[១] ។ អថខោ សុទិន្នោ កលន្ទបុត្តោ ឯកម្បិ ភត្តំ ន ភុញ្ជិ ទ្វេបិ ភត្តានិ ន ភុញ្ជិ តីណិបិ ភត្តានិ ន ភុញ្ជិ ចត្តារិបិ ភត្តានិ ន ភុញ្ជិ បញ្ចបិ ភត្តានិ ន ភុញ្ជិ ឆបិ ភត្តានិ ន ភុញ្ជិ សត្តបិ ភត្តានិ ន ភុញ្ជិ ។

[១៦] អថខោ សុទិន្នស្ស កលន្ទបុត្តស្ស មាតាបិតរោ សុទិន្នំ កលន្ទបុត្តំ ឯតទវោចុំ ត្វំ ខោសិ តាត សុទិន្ន អម្ហាកំ ឯកបុត្តកោ បិយោ មនាបោ សុខេធិតោ សុខបរិហតោ ន ត្វំ តាត សុទិន្ន កិញ្ចិ ទុក្ខស្ស ជានាសិ មរណេនបិ មយន្តេ អកាមកា វិនា ភវិស្សាម

១ បព្វជ្ជាយាតិបិ ឆាយោ ។



នែសុទិន្នកូន ព្រោះឯងជាបុត្រតែមួយ ជាទីស្រឡាញ់ពេញចិត្តរបស់យើង ធ្លាប់ចំរើនតែក្នុងសេចក្តីសុខ មានអ្នកថែទាំឲ្យបានសេចក្តីសុខ នែបា សុទិន្ន ព្រោះឯងមិនស្គាល់សេចក្តីទុក្ខបន្តិចសោះ ទោះបីស្លាប់ទៅក្តី យើងក៏មិនព្រមឲ្យព្រាត់ប្រាសចាកបា យើងនឹងអនុញ្ញាតបា ដែលកំពុងរស់នៅ ឲ្យចេញចាកផ្ទះ ហើយបួសក្នុងសាសនាដូចម្តេចបាន ។ គ្រានោះឯង សុទិន្នកលន្ទបុត្រគិតថា មាតាបិតាមិនអនុញ្ញាតអញឲ្យចេញចាកផ្ទះបួសក្នុងសាសនា ដូច្នេះហើយ ក៏ដួលដេកនៅលើផែនដី ប្រាសចាកគ្រឿងក្រាលក្នុងទីនោះឯងដោយគិតថា អញនឹងស្លាប់ឬនឹងបានបួសក្នុងទីនេះជាប្រាកដ ។ គ្រានោះ សុទិន្នកលន្ទបុត្រ មិនបានបរិភោគបាយអស់មួយពេល ២ពេលក៏មាន ៣ពេលក៏មាន ៤ពេលក៏មាន ៥ពេលក៏មាន ៦ពេលក៏មាន ៧ពេលក៏មាន ។

(១៦) លំដាប់នោះ មាតាបិតារបស់សុទិន្នកលន្ទបុត្រនិយាយនឹងសុទិន្នកលន្ទបុត្រថា ម្នាលសុទិន្នកូន ព្រោះឯងជាកូនប្រុសតែមួយហើយជាទីស្រឡាញ់ពេញចិត្តរបស់យើង ធ្លាប់សុខធ្លាប់សប្បាយដោយមានស្រីពីលៀងថែរក្សា សុទិន្នកូន ព្រោះឯងមិនធ្លាប់ស្គាល់សេចក្តីទុក្ខតិចតួចសោះ ទោះបីបាស្លាប់ទៅក្តី យើងក៏មិនចង់ឲ្យព្រាត់ប្រាសចាកបាឡើយ

កឹ បន មយំ តំ ជីវន្តំ អនុជានិស្សាម អគារស្មា អនគារិយំ បព្វជ្ជាយ ឧដ្ឋេហិ តាត សុទិន្ន ភុញ្ជ ច បិវ ច បរិចារេហិ ច ភុញ្ជន្តោ បិវន្តោ បរិចារេន្តោ កាមេ បរិភុញ្ជន្តោ បុញ្ញានិ ករោន្តោ អភិរមស្សុ ន តំ មយំ អនុជានាម អគារស្មា អន-គារិយំ បព្វជ្ជាយាតិ ។ ឯវំ វុត្តេ សុទិន្នោ កលន្ទ-បុត្តោ តុណ្ហី អហោសិ ។ ទុតិយម្បិ ខោ ។ បេ ។ តតិយម្បិ ខោ សុទិន្នស្ស កលន្ទបុត្តស្ស មាតាបិតរោ សុទិន្នំ កលន្ទបុត្តំ ឯតទវោចុំ ត្វំ ខោសិ តាត សុទិន្ន អម្ហាកំ ឯកបុត្តកោ បិយោ មនាបោ សុខេធិតោ សុខ-បរិហតោ ន ត្វំ តាត សុទិន្ន កិញ្ចិ ទុក្ខស្ស ជានាសិ មរណេនបិ មយន្តេ អកាមកា វិនា ភវិស្សាម កឹ បន មយំ តំ ជីវន្តំ អនុជានិស្សាម អគារស្មា អនគា-រិយំ បព្វជ្ជាយ ឧដ្ឋេហិ តាត សុទិន្ន ភុញ្ជ ច បិវ ច បរិចារេហិ ច ភុញ្ជន្តោ បិវន្តោ បរិចារេន្តោ កាមេ បរិភុញ្ជន្តោ បុញ្ញានិ ករោន្តោ អភិរមស្សុ ន តំ មយំ អនុជានាម អគារស្មា អនគារិយំ បព្វជ្ជាយាតិ ។ តតិ-យម្បិ ខោ សុទិន្នោ កលន្ទបុត្តោ តុណ្ហី អហោសិ ។



យើងនឹងអនុញ្ញាតអ្នកកំពុងរស់នៅ ឲ្យចេញចាកផ្ទះហើយបួសក្នុងព្រះពុទ្ធ-សាសនាដូចម្តេចបាន សុទិន្នកូន អ្នកចូរក្រោកឡើងបរិភោគបាយផឹកទឹក និងឲ្យគេបំរើទៅ កាលបើអ្នកបរិភោគបាយផឹកទឹកនិងឲ្យគេបំរើហើយ ចូរបរិភោគកាមនិងធ្វើបុណ្យចុះ យើងមិនព្រមអនុញ្ញាតឲ្យអ្នកចេញចាកផ្ទះ ហើយបួសក្នុងព្រះពុទ្ធសាសនាទេ ។ កាលបើមាតាបិតាពោលយ៉ាងនេះហើយ សុទិន្នកលន្ទបុត្រ ក៏ស្ងៀមនៅ ។ មាតាបិតាសុទិន្នកលន្ទ-បុត្រ និយាយនឹងសុទិន្នកលន្ទបុត្រពីរដង ។បេ។ បីដងថា សុទិន្នកូន អ្នកឯងជាកូនប្រុសតែមួយ ជាទីស្រឡាញ់ពេញចិត្តយើង ធ្លាប់ចំរើនដោយសេចក្តីសុខ បានគង់[illegible]នឹងថែរក្សាសប្បាយ សុទិន្នកូន អ្នកឯងមិនដែលស្គាល់សេចក្តីទុក្ខតិចតួចសោះ ទោះបីអ្នកឯងស្លាប់ទៅក្តី យើងមិនចង់ឲ្យព្រាត់ប្រាសចាកអ្នកឯងឡើយ យើងនឹងអនុញ្ញាតដល់អ្នកកំពុងរស់នៅឲ្យចេញចាកផ្ទះ ហើយបួសក្នុងព្រះពុទ្ធសាសនាដូចម្តេចបាន សុទិន្នកូន អ្នកចូរក្រោកឡើងបរិភោគបាយផឹកទឹក និងឲ្យគេបំរើទៅ កាលបរិភោគបាយផឹកទឹក និងឲ្យគេបំរើហើយ ចូរបរិភោគកាមនិងធ្វើបុណ្យតាមប្រាថ្នាចុះ យើងមិនព្រមអនុញ្ញាតឲ្យអ្នកចេញចាកផ្ទះហើយបួសក្នុងព្រះពុទ្ធសាសនាទេ ។ សុទិន្នកលន្ទបុត្រក៏ស្ងៀមនៅទៀតជាគំរប់បីដង ។

(១៣) អថខោ សុទិន្នស្ស កលន្ទបុត្តស្ស សហាយកា យេន សុទិន្នោ កលន្ទបុត្តោ តេនុប- សង្កមឹសុ ឧបសង្កមិត្វា សុទិន្នំ កលន្ទបុត្តំ ឯតទ- វោចុំ ត្វំ ខោសិ សម្ម សុទិន្ន មាតាបិតូនំ ឯកបុត្តកោ បិយោ មនាបោ សុខេធិតោ សុខ- បរិហតោ ន ត្វំ សម្ម សុទិន្ន កិញ្ចិ ទុក្ខស្ស ជានាសិ មរណេនបិ តេ មាតាបិតរោ អកាមកា វិនា ភវិស្សន្តិ កឹ បន តំ ជីវន្តំ អនុជានិស្សន្តិ អគារស្មា អនគារិយំ បព្វជ្ជាយ ឧដ្ឋេហិ សម្ម សុទិន្ន ភុញ្ជ ច បិវ ច បរិចារេហិ ច ភុញ្ជន្តោ បិវន្តោ បរិចារេន្តោ កាមេ បរិភុញ្ជន្តោ បុញ្ញានិ ករោន្តោ អភិរមស្សុ ន តំ មាតាបិតរោ អនុជានន្តិ អគារស្មា អនគារិយំ បព្វជ្ជាយាតិ ។ ឯវំ វុត្តេ សុទិន្នោ កលន្ទបុត្តោ តុណ្ហី អហោសិ ។ ទុតិយម្បិ ខោ ។ បេ ។ តតិយម្បិ ខោ សុទិន្នស្ស កលន្ទ- បុត្តស្ស សហាយកា សុទិន្នំ កលន្ទបុត្តំ ឯតទវោចុំ



(១៣) លំដាប់នោះ ពួកសំឡាញ់សុទិន្នកលន្ទបុត្រ បាននាំគ្នាចូលទៅ និយាយអង្វរសុទិន្នកលន្ទបុត្រថា នែសុទិន្នសំឡាញ់ អ្នកឯងជាកូនប្រុសតែ មួយ ហើយជាទីស្រឡាញ់ពេញចិត្តរបស់មាតាបិតា ធ្លាប់បានសេចក្តីសុខ មានគេតាំងស្រែតៈល្បៀនថែរក្សាសប្បាយ នែសុទិន្នសំឡាញ់ អ្នកឯងមិនធ្លាប់ ស្គាល់សេចក្តីលំបាកតិចតួចសោះទេ ពោះបើអ្នកស្លាប់ទៅក្តី មាតាបិតា របស់អ្នក ក៏មិនចង់ឲ្យព្រាត់ប្រាសចាកអ្នកឡើយ មាតាបិតាទាំងឡាយ របស់អ្នកនឹងអនុញ្ញាតអ្នកដែលកំពុងរស់នៅឲ្យចេញចាកផ្ទះ ហើយបួស ក្នុងព្រះពុទ្ធសាសនាដូចម្តេចបាន នែសុទិន្នសំឡាញ់ ចូរអ្នកក្រោកឡើង បរិភោគបាយ ផឹកទឹក ឲ្យគេបំរើទៅ កាលបើអ្នកបរិភោគបាយចំណី ផឹកទឹក ឲ្យគេបំរើខ្លួនហើយ នឹងបរិភោគនូវកាមទាំងឡាយ ធ្វើបុណ្យ (ទាន) រីករាយសប្បាយតាមសេចក្តីប្រាថ្នាចុះ មាតាបិតាទាំងឡាយ របស់អ្នក មិនព្រមអនុញ្ញាតឲ្យអ្នកចេញចាកផ្ទះ ហើយបួសក្នុងព្រះពុទ្ធ- សាសនាទេ ។ កាលបើពួកសំឡាញ់របស់សុទិន្នពោលពាក្យយ៉ាងនេះ ហើយ សុទិន្នកលន្ទបុត្រ ក៏នៅស្ងៀម ។ ពួកសំឡាញ់របស់សុទិន្ន- កលន្ទបុត្រ បាននិយាយពាក្យនេះនឹងសុទិន្នកលន្ទបុត្រក៏ដង ២ ។ បេ ។

ទំ ហោសិ សព្ព សុទិន្ន ។ បេ ។ តតិយម្បិ ខោ សុទិន្នោ កលន្ទបុត្តោ តុណ្ហី អហោសិ ។ អថខោ សុទិន្នស្ស កលន្ទបុត្តស្ស សហាយកា យេន សុទិន្នស្ស កលន្ទបុត្តស្ស មាតាបិតរោ តេនុបសង្កមឹសុ ឧបសង្កមិត្វា សុទិន្នស្ស កលន្ទបុត្តស្ស មាតាបិតរោ ឯតទវោចុំ អម្ម តាត ឯសោ សុទិន្នោ អនន្តរហិតាយ ភូមិយា និបន្នោ ឥធេវ មេ មរណំ ភវិស្សតិ បព្វជ្ជា វាតិ សចេ តុម្ហេ សុទិន្នំ នានុជានិស្សថ អគារស្មា អនគារិយំ បព្វជ្ជាយ តត្ថេវ មរណំ អាគមិស្សតិ សចេ បន តុម្ហេ សុទិន្នំ អនុជានិស្សថ អគារស្មា អនគារិយំ បព្វជ្ជាយ បព្វជិតម្បិ នំ ទក្ខិស្សថ សចេ សុទិន្នោ នាភិរមិស្សតិ អគារស្មា អនគារិយំ បព្វជ្ជាយ កា តស្ស អញ្ញា គតិ ភវិស្សតិ ឥធេវ បច្ចាគមិស្សតិ អនុជានាថ សុទិន្នំ អគារស្មា អនគារិយំ បព្វជ្ជាយាតិ ។ អនុជានាម តាត សុទិន្នំ អគារស្មា អនគារិយំ បព្វជ្ជាយាតិ ៕



បីដងថា នែសុទិន្នសំឡាញ់ អ្នកឯង ។បេ។ សុទិន្នកលន្ទបុត្រក៏នៅតែស្ងៀមអស់វារៈជាគំរប់បីដង ។ គ្រានោះឯង មាតាបិតាទាំងឡាយរបស់សុទិន្នកលន្ទបុត្រនៅក្នុងទីណា សំឡាញ់ទាំងឡាយរបស់សុទិន្នកលន្ទបុត្រ ក៏ចូលទៅក្នុងទីនោះ លុះចូលទៅដល់ហើយ ក៏បានពោលនូវពាក្យនេះ នឹងមាតាបិតាទាំងឡាយនៃសុទិន្នកលន្ទបុត្រថា បពិត្រលោកម្តាយលោកឪពុក សុទិន្ននេះ ដេកនៅលើផែនដី គេឥតកម្រាលអ្វីគ្មានសោះទេ ហើយគិតថា សេចក្តីស្លាប់ក្តី បព្វជ្ជាក្តី នឹងមានដល់អញក្នុងទីនេះឯង បើលោកទាំងឡាយមិនព្រមអនុញ្ញាតឲ្យសុទិន្នចេញចាកផ្ទះហើយបួសក្នុងព្រះពុទ្ធសាសនាទេ សុទិន្ននឹងដល់នូវសេចក្តីស្លាប់ ក្នុងទីនោះមិនខានឡើយ ប្រសិនណាបើលោកទាំងឡាយព្រមអនុញ្ញាតឲ្យសុទិន្នចេញចាកផ្ទះហើយបួសក្នុងព្រះពុទ្ធសាសនា គង់តែនឹងបានឃើញមុខសុទិន្នដែលនៅជាអ្នកបួសតទៅ បើសុទិន្នមិនត្រេកអរ ក្នុងបព្វជ្ជាហើយ គតិរបស់សុទិន្ននោះប្រព្រឹត្តទៅក្នុងទីដទៃដូចម្តេចបាន មុខជានឹងត្រឡប់មកក្នុងទីនេះវិញមិនខាន ដូច្នេះ សូមលោកទាំងឡាយ អនុញ្ញាតឲ្យសុទិន្នចេញចាកផ្ទះហើយបួសក្នុងព្រះពុទ្ធសាសនា ។ មាតាបិតាទាំងឡាយនៃសុទិន្នក៏ពោលថា ម្នាលអ្នកទាំងឡាយ យើងទាំងឡាយព្រមអនុញ្ញាតឲ្យសុទិន្នចេញចាកផ្ទះហើយបួសក្នុងព្រះពុទ្ធសាសនាចុះ ។

ទុរសម្ភវំ ។ អចិរូបសម្បន្នោ ច បនាយស្មា សុទិន្នោ ឯវរូបេ ធុតគុណេ សមាទាយ វត្តតិ អារញ្ញិកោ ហោតិ បិណ្ឌបាតិកោ បំសុកូលិកោ សបទាន-ចារិកោ អញ្ញតរំ វជ្ជិគាមំ ឧបនិស្សាយ វិហរតិ ។

(១៥) តេន ខោ បន សមយេន វជ្ជី ទុព្ភិក្ខា ហោតិ ទ្វីហិតិកា សេតដ្ឋិកា សលាកាវុត្តា ន សុករា ឧញ្ឆេន បគ្គហេន យាបេតុំ ។ អថខោ អាយស្មតោ សុទិន្នស្ស ឯតទហោសិ ឯតរហិ ខោ វជ្ជី ទុព្ភិក្ខា ទ្វីហិតិកា សេតដ្ឋិកា សលាកាវុត្តា



ក្នុងសំណាក់ព្រះដ៏មានព្រះភាគហើយ ។ សុទិន្នភិក្ខុដ៏មានអាយុបានឧប-សម្បទាហើយមិនយូរប៉ុន្មាន ក៏ប្រព្រឹត្តសមាទានធុតង្គគុណ មានសភាពយ៉ាងនេះ គឺ ជាអ្នកនៅក្នុងព្រៃ ប្រព្រឹត្តបិណ្ឌបាត ប្រើប្រាស់សម្ពត់បំសុកូលនិងត្រាច់ទៅ (បិណ្ឌបាត) តាមលំដាប់ផ្ទះ ហើយចូលទៅអាស្រ័យនៅក្នុងស្រុកវជ្ជីឯណាមួយ ។

(១៥) សម័យនោះឯង ស្រុកវជ្ជីមានអំណត់អត់បាយ មនុស្សទាំងឡាយនឹងចិញ្ចឹមជីវិតបានដោយកម្រក្រពេក មនុស្សណាដែលក្រលំបាក ស្រាប់តែដល់នូវសេចក្តីស្លាប់មានឆ្អឹងស (ដេរដាសលើផែនដី) មនុស្សដែលមានទ្រព្យសម្បត្តិល្មមទិញដូរស្រូវអង្ករគេបាន ក៏មិនងាយនឹងទិញដូរដែរ លុះតែមានស្លាកជាទីសំគាល់ទើបទិញដូរបាន ជនទាំងអស់ក្នុងស្រុកនោះ នឹងរកអាហារបានដោយកម្រក្រពេក ។ លំដាប់នោះឯង សុទិន្នភិក្ខុដ៏មានអាយុមានសេចក្តីត្រិះរិះដូច្នេះថា ក្នុងកាលឥឡូវនេះ ស្រុកវជ្ជីមានអំណត់អត់បាយ មនុស្សទាំងឡាយនឹងចិញ្ចឹមជីវិតបានដោយកម្រក្រពេក មនុស្សណាដែលក្រលំបាកស្រាប់តែដល់នូវសេចក្តីស្លាប់មានឆ្អឹងស (ដេរដាសលើផែនដី) មនុស្សដែលមានទ្រព្យសម្បត្តិល្មមទិញដូរស្រូវអង្ករគេបានក៏មិនងាយនឹងទិញដូរដែរ លុះតែមានស្លាកជាទីសំគាល់

ច សុករា ឧញ្ឆេន បគ្គហេន យាបេតុំ ពហូ ខោ បន មេ វេសាលិយំ ញាតកា(១) អឌ្ឍា មហទ្ធនា មហាភោគា បហូតជាតរូបរជតា បហូតវិត្តូបករណា បហូតធនធញ្ញា យន្នូនាហំ ញាតកេ(២) ឧបនិស្សាយ វិហរេយ្យំ ញាតកា(៣) មំ និស្សាយ ទានានិ ទស្សន្តិ បុញ្ញានិ ករិស្សន្តិ ភិក្ខូ ច លាភំ លច្ឆន្តិ អហញ្ច បិណ្ឌកេន ន កិលមិស្សាមីតិ ។ អថខោ អាយស្មា សុទិន្នោ សេនាសនំ សំសាមេត្វា បត្តចីវរមាទាយ យេន វេសាលី តេន បក្កាមិ អនុបុព្វេន ចារិកំ(៤) ចរមានោ(៥) យេន វេសាលី តទវសរិ ។ តត្រ សុទំ អាយស្មា សុទិន្នោ វេសាលិយំ វិហរតិ មហាវនេ កូដាគារសាលាយំ ។ អស្សោសុំ ខោ អាយស្មតោ សុទិន្នស្ស ញាតកា សុទិន្នោ កិរ កលន្ទបុត្តោ វេសាលឹ អនុប្បត្តោតិ ។ តេ អាយស្មតោ សុទិន្នស្ស សដ្ឋិមត្តេ ថាលិបាកេ ភត្តាភិហារំ អភិហរិំសុ ។ អថខោ អាយស្មា សុទិន្នោ តេ សដ្ឋិមត្តេ ថាលិបាកេ ភិក្ខូនំ វិស្សជ្ជេត្វា បុព្វណ្ហសមយំ និវាសេត្វា

១-២-៣ ឱ. ម. ញាតី ។ ៤-៥ [illegible] បោត្ថកេសុ ឥទំ បទទ្វយំ ន ទិស្សតិ ។



ដើម្បីចិញ្ចឹមរាងកាយ ដោយកំលាំងស្វែងរកនោះ ទំនងជាយាមស្រួល អាហារបានដោយកម្រៃក្រពក ញាតិទាំងឡាយរបស់អាត្មាអញច្រើនក្នុងក្រុងវេសាលី ជាអ្នកស្តុកស្តម្ភ មានទ្រព្យច្រើន មានភោគៈច្រើន មានមាសប្រាក់ច្រើន មានគ្រឿងឧបករណ៍ច្រើន មានទ្រព្យនិងស្រូវច្រើន បើដូច្នោះ មានតែអាត្មាអញ គប្បីចូលទៅអាស្រ័យនូវញាតិទាំងឡាយ ហើយនៅ ញាតិទាំងឡាយនោះ អាស្រ័យនូវអាត្មាអញហើយ នឹងបានឲ្យទាននិងធ្វើបុណ្យ ភិក្ខុទាំងឡាយនឹងបានលាភផង អាត្មាអញនឹងមិនលំបាកដោយបិណ្ឌបាតផង ។ ទើបសុទិន្នភិក្ខុមានអាយុរៀបចំសេនាសនៈ ហើយកាន់យកបាត្រនិងចីវរ ក្រុងវេសាលីនៅក្នុងទិសណា ក៏ចៀសចេញទៅក្នុងទិសនោះ កាលដែលត្រាច់ទៅកាន់ចារិកដោយលំដាប់ ៗ ក្រុងវេសាលីនៅក្នុងទីណា ក៏ចូលទៅដល់ទីនោះ ។ បានដំណឹងថា សុទិន្នភិក្ខុមានអាយុនៅក្នុងកូដាគារសាលា ក្នុងព្រៃមហាវនទៀបក្រុងវេសាលីនោះ ។ ពួកញាតិសុទិន្នភិក្ខុមានអាយុបានឮថា សុទិន្នភិក្ខុជាកលន្ទបុត្រមកដល់ក្រុងវេសាលីហើយ ។ ពួកញាតិទាំងនោះ ក៏នាំយកភោជនប្រមាណហុកសិបសម្រាប់ទៅប្រគេនសុទិន្នភិក្ខុមានអាយុ ។ លំដាប់នោះឯង សុទិន្នភិក្ខុមានអាយុ ចែកចាយសម្រាប់ប្រមាណហុកសិបថាសនោះ ដល់ភិក្ខុទាំងឡាយ ហើយស្លៀកស្បង់

បត្តចីវរមាទាយ កលន្ទកំ បិណ្ឌាយ បាវិសិ ។ កលន្ទកគាមេ សបទានំ បិណ្ឌាយ ចរមានោ យេន សកបិតុ និវេសនំ តេនុបសង្កមិ ។ តេន ខោ បន សមយេន អាយស្មតោ សុទិន្នស្ស ញាតិទាសី អាភិទោសិកំ កុម្មាសំ ឆឌ្ឌេតុកាមា ហោតិ ។ អថ ខោ អាយស្មា សុទិន្នោ តំ ញាតិទាសឹ ឯតទវោច សចេ តំ ភគិនិ ឆឌ្ឌនីយធម្មំ ឥធ មេ បត្តេ អាកិរាហីតិ ។ អថ ខោ អាយស្មតោ សុទិន្នស្ស ញាតិទាសី តំ អាភិទោសិកំ កុម្មាសំ អាយស្មតោ សុទិន្នស្ស បត្តេ អាកិរន្តី ហត្ថានញ្ច បាទានញ្ច សរស្ស ច និមិត្តំ អគ្គហេសិ ។ អថ ខោ អាយស្មតោ សុទិន្នស្ស ញាតិទាសី យេនាយស្មតោ សុទិន្នស្ស មាតា តេនុបសង្កមិ ឧបសង្កមិត្វា អាយស្មតោ សុទិន្នស្ស មាតរំ ឯតទវោច យគ្ឃយ្យេ ជានេយ្យាសិ អយ្យបុត្តោ សុទិន្នោ អនុប្បត្តោតិ ។ សចេ ជេ សច្ចំ ភណសិ អទាសឹ តំ ករោមីតិ ។ តេន ខោ បន សមយេន អាយស្មា សុទិន្នោ តំ អាភិទោសិកំ កុម្មាសំ អញ្ញតរំ កុដ្ដមូលំ និស្សាយ បរិភុញ្ជតិ ។ បិតាបិ ខោ អាយស្មតោ សុទិន្នស្ស កម្មន្តា អាគច្ឆន្តោ



ប្រដាប់ដោយបាត្រនិងចីវរក្នុងវេលាព្រឹក ហើយចូលទៅកាន់កលន្ទគ្រាម ដើម្បីបិណ្ឌបាត កាលដើរទៅដើម្បីបិណ្ឌបាតតាមលំដាប់ផ្ទះក្នុងកលន្ទគ្រាម លំនៅនៃបិតារបស់ខ្លួននៅក្នុងទីណា ចូលទៅក្នុងទីនោះ ។ ក៏ក្នុងសម័យនោះឯង ទាសីរបស់ញាតិនៃសុទិន្នភិក្ខុដ៏មានអាយុ មានប្រាថ្នាដើម្បីបោះបង់កុម្មាសប្អូម ។ គ្រានោះ សុទិន្នភិក្ខុដ៏មានអាយុ និយាយនឹងខ្ញុំស្រីរបស់ញាតិនោះថា ម្នាលនាងទាសិ បើរបស់នោះជារបស់ចោលហើយ ចូរនាងចាក់ដាក់មកក្នុងបាត្រអាត្មានេះវិញ ។ លំដាប់នោះ ខ្ញុំស្រីនៃញាតិរបស់សុទិន្នដ៏មានអាយុ កំពុងចាក់កុម្មាសប្អូមនោះទៅក្នុងបាត្ររបស់សុទិន្ន ហើយបានស្គាល់ជាក់ច្បាស់នូវដៃជើងនិងសំឡេងរបស់សុទិន្នយ៉ាងច្បាស់ ។ វេលានោះ មាតារបស់សុទិន្នដ៏មានអាយុនៅក្នុងទីណា ខ្ញុំស្រីរបស់ញាតិនៃសុទិន្នដ៏មានអាយុក៏ចូលទៅក្នុងទីនោះ លុះចូលទៅដល់ហើយ ក៏និយាយនឹងមាតារបស់សុទិន្នដ៏មានអាយុថា បពិត្រអ្នកម្ចាស់ សូមអ្នកជ្រាប សុទិន្នជាអយ្យបុត្រ និមន្តមកដល់ហើយ ។ មាតារបស់សុទិន្នឆ្លើយថា នែហងឯង បើហងឯងនិយាយពាក្យពិតមែន អញនឹងឲ្យហងរួចជាអ្នកជា ។ សម័យនោះឯង សុទិន្នភិក្ខុដ៏មានអាយុក៏បានឆាន់កុម្មាសប្អូមនោះផ្អែកជញ្ជាំងសាលា១ ។ ចំណែកខាងបិតារបស់សុទិន្នមកពីធ្វើការងារវិញ

អទ្ទស អាយស្មន្តំ សុទិន្នំ តំ អាភិទោសិកំ កុម្មាសំ
អញ្ញតរំ កុឌ្ឌមូលំ និស្សាយ បរិភុញ្ជន្តំ ទិស្វាន យេនា-
យស្មា សុទិន្នោ តេនុបសង្កមិ ឧបសង្កមិត្វា អាយស្មន្តំ
សុទិន្នំ ឯតទវោច អត្ថិ នាម តាត សុទិន្ន អាភិទោសិកំ
កុម្មាសំ បរិភុញ្ជិស្សសិ ននុ[១] តាត សុទិន្ន សកំ គេហំ[២]
គន្តព្វន្តិ ។ អគមម្ហា ខោ តេ គហបតិ គេហំ តតាយំ[៣]
អាភិទោសិកោ កុម្មាសោ មយា លទ្ធោតិ[៤] ។ អថខោ
អាយស្មតោ សុទិន្នស្ស បិតា អាយស្មតោ សុទិន្នស្ស
ពាហាយំ គហេត្វា អាយស្មន្តំ សុទិន្នំ ឯតទវោច ឯហិ
តាត សុទិន្ន ឃរំ គមិស្សាមាតិ ។ អថខោ អាយស្មា
សុទិន្នោ យេន សកបិតុ និវេសនំ តេនុបសង្កមិ ឧប-
សង្កមិត្វា បញ្ញត្តេ អាសនេ និសីទិ ។ អថខោ អាយស្ម-
តោ សុទិន្នស្ស បិតា អាយស្មន្តំ សុទិន្នំ ឯតទវោច ភុញ្ជ
តាត សុទិន្នាតិ ។ អលំ គហបតិ កតំ មេ អជ្ជ ភត្ត-
កិច្ចន្តិ ។ អធិវាសេហិ តាត សុទិន្ន ស្វាតនាយ ភត្តន្តិ ។
អធិវាសេសិ ខោ អាយស្មា សុទិន្នោ តុណ្ហីភាវេន ។
អថខោ អាយស្មា សុទិន្នោ ឧដ្ឋាយាសនា បក្កាមិ ។

១ ម. ឧ. ននុ នាម ។ ២ ម. ម. សកំ គេហំ ។ ៣ ម. តតោយំ ។ ៤ មយា លទ្ធោតិ
ជាបទមួយ [illegible] ទិស្សតិ ។



ក៏បានឃើញសុទិន្នកំពុងឆាន់នំកុម្មាសជូរនោះ ផ្អែកជញ្ជាំងសាលា លុះ
ឃើញហើយ សុទិន្នភិក្ខុនៅក្នុងទីណា (បិតានោះ) ក៏ចូលទៅក្នុងទីនោះ
លុះចូលទៅហើយក៏និយាយនឹងសុទិន្នដ៏មានអាយុថា នែសុទិន្នកូន យើង
ជាអ្នកមានទ្រព្យសម្បត្តិច្រើន ម្តេចក៏លោកមកឆាន់នំកុម្មាសជូរវិញ សុទិន្ន
កូនគួរតែលោកទៅផ្ទះរបស់ខ្លួនវិញ ។ សុទិន្នភិក្ខុឆ្លើយថា បពិត្រ
គហបតី អាត្មាបានទៅផ្ទះញោមហើយ នំកុម្មាសជូរនេះ អាត្មាបានពីផ្ទះ
នោះមក ។ លំដាប់នោះ បិតាសុទិន្នភិក្ខុ ក៏ចាប់ក្តោងដៃសុទិន្នភិក្ខុហើយ
និយាយនឹងសុទិន្នថា សុទិន្នកូន លោកចូរមក យើងនឹងទៅផ្ទះ ។ លំដាប់
នោះ លំនៅបិតារបស់ខ្លួននៅក្នុងទីណា សុទិន្នដ៏មានអាយុ ក៏ចូលទៅ
ក្នុងទីនោះ លុះចូលទៅដល់ហើយ ក៏គង់លើអាសនៈដែលគេក្រាល
ប្រគេន ។ បិតាក៏និយាយនឹងសុទិន្នក្នុងវេលានោះថា សុទិន្នកូន សូម
លោកនិមន្តឆាន់ចង្ហាន់ ។ សុទិន្នឆ្លើយថា ណ្ហើយគហបតី ថ្ងៃនេះភត្ត-
កិច្ចបានរួចហើយ ។ បិតាឆ្លើយថា សុទិន្នកូន សូមលោកនិមន្តទទួល
ចង្ហាន់ក្នុងថ្ងៃស្អែក ។ សុទិន្នភិក្ខុ ក៏ទទួលនិមន្តដោយតុណ្ហីភាព ។
សុទិន្នភិក្ខុក៏ក្រោកចាកអាសនៈហើយនិមន្តទៅក្នុងវេលានោះឯង ។

(១៦) អថ ខោ អាយស្មតោ សុទិន្នស្ស មាតា តស្សា រត្តិយា អច្ចយេន ហរិតេន គោមយេន បឋវឹ ឱបុញ្ជាបេត្វា ទ្វេ បុញ្ជេ ការាបេសិ ឯកំ ហិរញ្ញស្ស ឯកំ សុវណ្ណស្ស តាវ មហន្តា បុញ្ជា អហេសុំ ឱរតោ ឋិតោ បុរិសោ បារតោ ឋិតំ បុរិសំ ន បស្សតិ បារតោ ឋិតោ បុរិសោ ឱរតោ ឋិតំ បុរិសំ ន បស្សតិ តេ បុញ្ជេ កិលញ្ជេហិ បដិច្ឆាទាបេត្វា មជ្ឈេ អាសនំ បញ្ញាបេត្វា តិរោករណីយំ បរិក្ខិ-បាបេត្វា(១) អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកំ អាមន្តេសិ តេនហិ វធុ យេន អលង្ការេន អលង្កតា បុត្តស្ស សុទិន្នស្ស បិយា អហោសិ មនាបា. តេន អលង្ការេន អលង្ករោហិ ។ ឯវំ អយ្យេតិ ខោ អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកា អាយស្មតោ សុទិន្នស្ស មាតុយា បច្ចស្សោសិ ។ អថ ខោ អាយស្មា សុទិន្នោ បុព្វណ្ហសមយំ និវាសេត្វា បត្តចីវរមាទាយ យេន សកបិតុ និវេសនំ តេនុបសង្កមិ ឧបសង្កមិត្វា បញ្ញត្តេ អាសនេ និសីទិ ។ អថ ខោ អាយស្មតោ សុទិន្នស្ស បិតា យេនាយស្មា សុទិន្នោ តេនុបសង្កមិ ឧបសង្កមិត្វា តេ បុញ្ជេ វិវរាបេត្វា

១ យុរោបយោន បរិក្ខិបិត្វាតិ បាឋោ ទិស្សតិ ។



(១៦) លុះដល់វេលាព្រឹកឡើង មាតាសុទិន្នភិក្ខុ ប្រើមនុស្សឲ្យបង្អាប់ផែនដីដោយគោមយ៍ស្រស់ រួចឲ្យគរគំនរទ្រព្យពីរគំនរ គឺប្រាក់១គំនរ មាស១គំនរ ជាគំនរធំៗ បុរសឈរខាងអាយមើលទៅបុរសឈរខាងនាយមិនឃើញ បុរសឈរខាងនាយមើលមកបុរសឈរខាងអាយក៏មិនឃើញ ហើយឲ្យបិទបាំងនូវគំនរទាំងពីរនោះដោយកន្ទេល ឲ្យក្រាលអាសនៈទុកត្រង់កណ្តាល រួចឲ្យបាំងនូវវាំងននជុំវិញពីខាងក្រៅ (គំនរនោះ) ហើយហៅស្រីជាគូពីមុនរបស់សុទិន្នដ៏មានអាយុមកបង្គាប់ថា កូនស្រី បើដូច្នោះ គ្រឿងប្រដាប់ណាដែលឯងស្អិតស្អាងហើយ ជាទីស្រឡាញ់ពេញចិត្តរបស់សុទិន្នកូនអញ ចូរឯងស្អិតស្អាងគ្រឿងប្រដាប់នោះចុះ ។ ស្រីជាគូពីមុនរបស់សុទិន្នដ៏មានអាយុ ក៏ទទួលពាក្យមាតារបស់សុទិន្នដ៏មានអាយុថា ចាស អ្នកមាតា ។ គ្រានោះ សុទិន្នដ៏មានអាយុស្លៀកស្បង់រួចកាន់យកបាត្រនិងចីវរក្នុងវេលាព្រឹក លំនៅបិតារបស់ខ្លួននៅត្រង់ទីណា ចូលទៅត្រង់ទីនោះ លុះចូលទៅដល់ហើយ ក៏គង់លើអាសនៈដែលគេក្រាលទុកថ្វាយ ។ លំដាប់នោះ បិតារបស់សុទិន្នដ៏មានអាយុ សុទិន្នដ៏មានអាយុនៅត្រង់ទីណា ក៏ចូលទៅត្រង់ទីនោះ លុះចូលទៅដល់ហើយ បង្គាប់អ្នកបំរើឲ្យបើក

អាយស្មន្តំ សុទិន្នំ ឯតទវោច ឥទន្តេ តាត សុទិន្ន មាតុមត្តិកំ ឥត្ថិកាយ ឥត្ថីធនំ អញ្ញំ បេត្តិកំ អញ្ញំ បិតាមហំ លព្ភា តាត សុទិន្ន ហីនាយាវត្តិត្វា ភោគា ច ភុញ្ជិតុំ បុញ្ញានិ ច កាតុំ ឯហិ ត្វំ តាត សុទិន្ន ហីនាយាវត្តិត្វា ភោគេ ច ភុញ្ជស្សុ បុញ្ញានិ ច ករោហីតិ ។ តាត ន ឧស្សហាមិ ន វិសហាមិ អភិរតោ អហំ ព្រហ្មចរិយំ ចរាមីតិ ។ ទុតិយម្បិ ខោ ។ បេ ។ តតិយម្បិ ខោ អាយស្មតោ សុទិន្នស្ស បិតា អាយស្មន្តំ សុទិន្នំ ឯតទវោច ឥទន្តេ តាត សុទិន្ន មាតុមត្តិកំ ឥត្ថិកាយ ឥត្ថីធនំ អញ្ញំ បេត្តិកំ អញ្ញំ បិតាមហំ លព្ភា តាត សុទិន្ន ហីនាយាវត្តិត្វា ភោគា ច ភុញ្ជិតុំ បុញ្ញានិ ច កាតុំ ឯហិ ត្វំ តាត សុទិន្ន ហីនាយាវត្តិត្វា ភោគេ ច ភុញ្ជស្សុ បុញ្ញានិ ច ករោហីតិ ។ វទេយ្យាម ខោ តំ គហបតិ សចេ ត្វំ នាតិកឌ្ឍេយ្យាសីតិ ។ វទេហិ តាត សុទិន្នាតិ ។ តេនហិ ត្វំ គហបតិ



គំនរទ្រព្យទាំងនោះ ហើយប្រាប់សុទិន្នដ៏មានអាយុថា សុទិន្នកូន នេះជាទ្រព្យសម្បាច់ដើមខាងស្រីរបស់មាតាលោក នៅមានទ្រព្យសម្បាច់ដើមខាងប្រុសរបស់បិតានឹងមត៌ករបស់ជីតាផ្សេងទៀត សុទិន្នកូន បើលោកបានសឹកចេញជាគ្រហស្ថមក នឹងបានប្រើប្រាស់សម្បត្តិផង ធ្វើបុណ្យទាំងឡាយផង សុទិន្នកូន ចូរលោកសឹកចេញជាគ្រហស្ថមក ហើយនឹងប្រើប្រាស់សម្បត្តិទាំងឡាយផង ធ្វើបុណ្យឲ្យទានផង ។ សុទិន្នតបថា ញោម អាត្មាមិនអាចនឹងសឹកបានទេ ព្រោះអាត្មាពេញចិត្តត្រេកអរប្រព្រឹត្តព្រហ្មចរិយធម៌ ។ បិតាសុទិន្នដ៏មានអាយុ និយាយនឹងសុទិន្នដ៏មានអាយុ ជាគំរប់ពីរដងផង ។ បេ ។ ជាគំរប់បីដងផងថា សុទិន្នកូន នេះជាទ្រព្យសម្បាច់ដើមខាងស្រីរបស់មាតាលោក នៅមានទ្រព្យសម្បាច់ដើមខាងប្រុសរបស់បិតានឹងមត៌ករបស់ជីតាផ្សេងទៀត សុទិន្នកូន បើលោកបានសឹកចេញជាគ្រហស្ថមក នឹងបានគ្រប់គ្រងសម្បត្តិទាំងឡាយផង ធ្វើបុណ្យឲ្យទានផង ។ សុទិន្នកូន ចូរលោកសឹកចេញជាគ្រហស្ថមក ហើយគ្រប់គ្រងសម្បត្តិទាំងឡាយផង ធ្វើបុណ្យឲ្យទានផង ។ សុទិន្នក៏តបថា គហបតី បើញោមអត់ទោសឲ្យអាត្មាភាព ។ នឹងសូមជំរាបញោមបន្តិច ។ បិតាទទួលព្រមថា សុទិន្នកូន ចូរលោកនិយាយមកចុះ មិនជាអ្វីទេ ។ សុទិន្នក៏ប្រាប់ថា គហបតី

មហន្តេ មហន្តេ សាណិបសិព្វកេ ការាបេត្វា ហិរញ្ញសុវណ្ណស្ស បូរាបេត្វា សកដេហិ និព្វាហាបេត្វា មជ្ឈេ គង្គាយ សោតេ ឱសាទេហិ[១] តំ កិស្ស ហេតុ យំ ហិ តេ គហបតិ ភវិស្សតិ តតោនិទានំ ភយំ វា ឆម្ភិតត្តំ វា លោមហំសោ វា អារក្ខោ វា សោ តេ ន ភវិស្សតីតិ ។ ឯវំ វុត្តេ អាយស្មតោ សុទិន្នស្ស បិតា អនត្តមនោ អហោសិ កថំ ហិ នាម បុត្តោ សុទិន្នោ ឯវំ វក្ខតីតិ ។ អថខោ អាយស្មតោ សុទិន្នស្ស បិតា អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកំ អាមន្តេសិ តេនហិ វធុ ត្វំ បិយា ច មនាបា ច អប្បេវនាម បុត្តោ សុទិន្នោ តុយ្ហំបិ វចនំ ករេយ្យាតិ ។ អថខោ អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកា អាយស្មតោ សុទិន្នស្ស បាទេសុ គហេត្វា អាយស្មន្តំ សុទិន្នំ ឯតទវោច កីទិសា នាម តា អយ្យបុត្ត អច្ឆរាយោ យាសំ ត្វំ ហេតុ ព្រហ្មចរិយំ ចរសីតិ ។

១ ម. ឱតារេហិ ។ ម. ក. ឱសារេហិ ។



បើដូច្នោះ ញោមត្រូវបង្គាប់មនុស្សឲ្យធ្វើការុងធំៗ ហើយឲ្យច្រកប្រាក់និងមាសឲ្យពេញ រួចដឹកដោយរទេះ យកទៅចាក់ចោលក្នុងកណ្ដាលខ្សែទឹកទន្លេគង្គា ហេតុអ្វីបានជាអាត្មាថាដូច្នោះ គហបតី ព្រោះថាទ្រព្យទាំងពួងណែមានដល់អ្នកណាហើយ សេចក្ដីខ្លាចក្ដី សេចក្ដីតក់ស្លុតក្ដី សេចក្ដីព្រឺរោមក្ដី ការថែរក្សាក្ដី តែងមានដល់អ្នកនោះមិនខាន ព្រោះតែទ្រព្យទាំងនោះជាហេតុ (បើអ្នកយកមាសប្រាក់ទៅចាក់ចោលក្នុងខ្សែទឹកហើយ) សេចក្ដីអន្តរាយទាំងអស់ដោយដើមនោះនឹងមិនមានដល់អ្នកឡើយ ។ កាលសុទិន្នដ៏មានអាយុពោលយ៉ាងនេះហើយ បិតារបស់សុទិន្នដ៏មានអាយុមានសេចក្ដីតូចចិត្តថា ហេតុដូចម្ដេច បានជាលោកសុទិន្នជាកូនពោលយ៉ាងនេះ ។ គ្រានោះឯង បិតារបស់សុទិន្នដ៏មានអាយុ ទើបហៅស្រីបុរាណទុតិយិការបស់សុទិន្នដ៏មានអាយុមកប្រាប់ថា នែនាងស្រី បើដូច្នោះ នាងឯងជាទីស្រឡាញ់ពេញចិត្តរបស់សុទិន្នកូនអញ ធ្វើដូចម្ដេចនឹងឲ្យសុទិន្នកូនអញធ្វើតាមពាក្យនាងឯងបាន ។ គ្រានោះឯង ស្រីបុរាណទុតិយិការបស់សុទិន្នដ៏មានអាយុបានប្រកាន់ជើងទាំងពីររបស់សុទិន្នដ៏មានអាយុហើយបាននិយាយពាក្យនេះនឹងសុទិន្នភិក្ខុថា បពិត្រអយ្យបុត្រ លោកប្រព្រឹត្តព្រហ្មចារ្យធម៌ ព្រោះហេតុនៃស្រីអប្សរទាំងឡាយណា ស្រីអប្សរទាំងឡាយនោះមានទ្រង់ទ្រាយប្រាកដដូចម្ដេចទៅ ។

ន ខោ អហំ ភគិនិ អច្ឆរានំ ហេតុ ព្រហ្មចរិយំ ចរាមីតិ ។ អថខោ អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកា អជ្ជ-តគ្គេ មំ អយ្យបុត្តោ សុទិន្នោ ភគិនិវាទេន សមុទាចរតីតិ តត្ថេវ មុច្ឆិតា បបតា ។ អថខោ អាយស្មា សុទិន្នោ បិតរំ ឯតទវោច សចេ គហបតិ ភោជនំ ទាតព្វំ ទេថ មា នោ វិហេឋយិត្ថាតិ ។ ភុញ្ជ តាត សុទិន្នាតិ ។ អថខោ អាយស្មតោ សុទិន្នស្ស មាតា ច បិតា ច អាយស្មន្តំ សុទិន្នំ បណីតេន ខាទនីយេន ភោជនីយេន សហត្ថា សន្តប្បេសុំ សម្បវារេសុំ ។ អថខោ អាយស្មតោ សុទិន្នស្ស មាតា អាយស្មន្តំ សុទិន្នំ ភុត្តាវឹ ឱនីតបត្តបាណឹ ឯតទវោច ឥទំ តាត សុទិន្ន កុលំ អឌ្ឍំ មហទ្ធនំ មហាភោគំ បហូតជាត-រូបរជតំ បហូតវិត្តូបករណំ បហូតធនធញ្ញំ លព្ភា តាត សុទិន្ន ហីនាយាវត្តិត្វា ភោគា ច ភុញ្ជិតុំ បុញ្ញានិ ច កាតុំ ឯហិ ត្វំ តាត សុទិន្ន ហីនាយាវត្តិត្វា ភោគេ ច ភុញ្ជស្សុ បុញ្ញានិ ច ករោហីតិ ។



សុទិន្នកលន្ទបុត្រថា ម្នាលប្អូនស្រី ខ្ញុំមិនបានប្រព្រឹត្តព្រហ្មចរិយៈព្រោះហេតុស្រីអប្សរទាំងនោះទេ ។ វេលានោះ ស្រីបុរាណទុតិយិការបស់សុទិន្នកលន្ទបុត្រ គិតតាមក្នុងចិត្តថា តាំងពីថ្ងៃនេះទៅ លោកសុទិន្នអយ្យបុត្រត្រាន់តែហៅខ្ញុំថាប្អូនស្រីៗ ប៉ុណ្ណោះទេ ដួលហើយ ក៏ដេកដួលដេកក្នុងទីនោះឯង ។ គ្រានោះ សុទិន្នដ៏មានអាយុពោលនិយាយពាក្យនេះនឹងបិតាថា គហបតី បើញោមមានភោជនគួរនឹងឲ្យទានពួកបាទសូមញោមឲ្យទានមកចុះ កុំបៀតបៀនឲ្យលំបាកពេកឡើយ ។ បិតាសុទិន្នឆ្លើយថា សុទិន្នកូន ភោជនាហារនោះមាន សូមលោកនិមន្តឆាន់ចុះ ។ វេលានោះ មាតាបិតារបស់សុទិន្នដ៏មានអាយុបានចាត់ចែងចង្ហាន់ដ៏ឆ្ងាញ់ពិសារឲ្យសុទិន្នកលន្ទបុត្រដ៏មានអាយុឆាន់ ដោយដៃខ្លួនឯង ។ សម័យនោះឯង មាតារបស់សុទិន្នដ៏មានអាយុបាននិយាយនឹងសុទិន្នកលន្ទបុត្រនៅវេលាឆាន់រួចហើយលែងលូកដៃទៅក្នុងបាត្រហើយថា នែសុទិន្នកូន ត្រកូលនេះស្តុកស្តម្ភ មានទ្រព្យច្រើន មានភោគៈច្រើន មានមាសប្រាក់បរិបូណ៌ មានគ្រឿងឧបក-រណ៍បរិបូណ៌ មានស្រូវអង្ករបរិបូណ៌ នែសុទិន្នកូន សូមលោកនិមន្តសឹកចេញជាគ្រហស្ថមក នឹងបានប្រើប្រាស់នូវទ្រព្យសម្បត្តិទាំងឡាយផង ធ្វើបុណ្យឲ្យទានផង សុទិន្នកូន សូមលោកនិមន្តសឹកចេញជាគ្រហស្ថមក ហើយនឹងចាយវាយនូវសម្បត្តិទាំងឡាយ ធ្វើបុណ្យឲ្យទានចុះ ។

អម្ម ន ឧស្សហាមិ ន វិសហាមិ អភិរតោ អហំ ព្រហ្មចរិយំ ចរាមីតិ ។ ទុតិយម្បិ ខោ ។ បេ ។ តតិយម្បិ ខោ អាយស្មតោ សុទិន្នស្ស មាតា អាយស្មន្តំ សុទិន្នំ ឯតទវោច ឥទំ តាត សុទិន្ន កុលំ អឌ្ឍំ មហទ្ធនំ មហាភោគំ បហូតជាតរូបរជតំ បហូតវិត្តូបករណំ បហូតធនធញ្ញំ តេនហិ តាត សុទិន្ន ពីជកម្បិ ទេហិ មា នោ អបុត្តកំ សាបតេយ្យំ លិច្ឆវិយោ[១] អតិហរាបេសុន្តិ ។ ឯតំ ខោ មេ អម្ម សក្កា កាតុន្តិ ។ កហំ បន តាត សុទិន្ន ឯតរហិ វិហរសីតិ ។ មហាវនេ អម្មាតិ ។ អថខោ អាយស្មតោ សុទិន្នស្ស មាតា ឧដ្ឋាយាសនា បក្កាមិ ។

(១៧) អថខោ អាយស្មតោ សុទិន្នស្ស មាតា អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកំ អាមន្តេសិ តេនហិ វធុ យទា ឧតុនី អហោសិ បុប្ផំ តេ ឧប្បន្នំ អថ មេ អារោចេយ្យាសីតិ ។ ឯវំ អយ្យេតិ ខោ អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកា អាយស្មតោ សុទិន្នស្ស មាតុយា បច្ចស្សោសិ ។

[១] សព្វត្ថ បោត្ថកេសុ លិច្ឆវិយោតិ បាឋោ ទិស្សតិ ។



សុទិន្នភិក្ខុឆ្លើយថា ម្ដាយ ខ្ញុំមិនអាចហ៊ាន (ធ្វើយ៉ាងនោះទេ) ខ្ញុំត្រេកអរចំពោះតែត្រង់ប្រព្រឹត្តព្រហ្មចរិយធម៌ប៉ុណ្ណោះ ។ មាតារបស់សុទិន្នភិក្ខុដ៏មានអាយុ បាននិយាយពាក្យនេះ នឹងសុទិន្នភិក្ខុដ៏មានអាយុ ជាគំរប់ពីរដងផង ។ បេ ។ ជាគំរប់បីដងផងថា សុទិន្នកូន ត្រកូលនេះ ស្ដុកស្ដម្ភ មានទ្រព្យច្រើន មានភោគៈច្រើន មានមាសប្រាក់បរិបូណ៌ មានគ្រឿងឧបករណ៍បរិបូណ៌ មានស្រូវអង្ករបរិបូណ៌ សុទិន្នកូន បើដូច្នេះ សូមលោកកាណាត ត្រាន់តែឲ្យពូជសន្ដានចុះ កុំឲ្យពួកស្ដេចលិច្ឆវីមករឹបជាន់យកទ្រព្យសម្បត្តិរបស់យើង ដែលជាត្រកូលឥតកូននោះឡើយ ។ សុទិន្នភិក្ខុឆ្លើយថា ម្ដាយ បើត្រាន់តែធ្វើកិច្ចប៉ុណ្ណេះ អាត្មាអាចធ្វើឲ្យបាន ។ មាតាសុទិន្នសួរថា សុទិន្នកូន ឥឡូវនេះ លោកគង់នៅឯណា ។ សុទិន្នភិក្ខុតបថា ម្ដាយ អាត្មានៅក្នុងព្រៃមហាវន ។ គ្រានោះឯង សុទិន្នដ៏មានអាយុ ក៏ក្រោកចាកអាសនៈហើយចេញដើរទៅ ។

(១៧) គ្រានោះ មាតារបស់សុទិន្នដ៏មានអាយុ ហៅនាងបុរាណទុតិយិការបស់សុទិន្នដ៏មានអាយុមក ហើយនិយាយថា ម្នាលនាងកូនប្រសា បើកាលណានាងមានរដូវហើយ ផ្កាគឺឈាមរបស់នាងកើតឡើងហើយ នាងត្រូវប្រាប់ដល់ម៉ែក្នុងកាលនោះ ។ នាងបុរាណទុតិយិការបស់សុទិន្នដ៏មានអាយុ បានទទួលពាក្យមាតារបស់សុទិន្នដ៏មានអាយុថា ចាសម៉ែ ។

អថខោ អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកា ន ចិរស្សេវ ឧតុនី អហោសិ បុប្ផំសា ឧប្បជ្ជិ ។ អថខោ អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកា អាយស្មតោ សុទិន្នស្ស មាតរំ ឯតទវោច ឧតុនិម្ហិ អយ្យេ បុប្ផំ មេ ឧប្បន្នន្តិ ។ តេនហិ វធុ យេន អលង្ការេន អលង្កតា បុត្តស្ស សុទិន្នស្ស បិយា អហោសិ មនាបា តេន អលង្ការេន អលង្ករាតិ ។ ឯវំ អយ្យេតិ ខោ អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកា អាយស្មតោ សុទិន្នស្ស មាតុយា បដិស្សុត្វា ។ អថខោ អាយស្មតោ សុទិន្នស្ស មាតា អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកំ អាទាយ យេន មហាវនំ យេនាយស្មា សុទិន្នោ តេនុបសង្កមិ ឧបសង្កមិត្វា អាយស្មន្តំ សុទិន្នំ ឯតទវោច ឥទំ តាត សុទិន្ន កុលំ អឌ្ឍំ មហទ្ធនំ មហាភោគំ បហូតជាតរូបរជតំ បហូតវិត្តូបករណំ បហូតធនធញ្ញំ លព្ភា តាត សុទិន្ន ហីនាយាវត្តិត្វា ភោគា ច ភុញ្ជិតុំ បុញ្ញានិ ច កាតុំ ឯហិ ត្វំ តាត សុទិន្ន ហីនាយាវត្តិត្វា ភោគេ ច ភុញ្ជស្សុ



លំដាប់នោះ នាងបុរាណទុតិយិការបស់សុទិន្នដ៏មានអាយុ មិនយូរប៉ុន្មាន នាងក៏មានរដូវ ផ្កាឈាមនៃនាងនោះក៏កើតឡើង ។ ទើបនាងបុរាណ-ទុតិយិការបស់សុទិន្នដ៏មានអាយុ បានប្រាប់មាតារបស់សុទិន្នដ៏មានអាយុ យ៉ាងនេះថា ម៉ែ ខ្ញុំមានរដូវហើយ ផ្កាឈាមរបស់ខ្ញុំកើតហើយ ។ មាតាតបថា ម្នាលនាងកូនប្រសា បើដូច្នោះនាងឯងប្រដាប់តាក់តែង ដោយគ្រឿងអលង្ការឯណា ដែលជាទីស្រឡាញ់ពេញចិត្តរបស់សុទិន្នកូន (យើង) នាងចូរប្រដាប់តាក់តែងដោយគ្រឿងសម្រាប់ស្អិតស្អាងនោះចុះ ។ នាងបុរាណទុតិយិការបស់សុទិន្នដ៏មានអាយុ បានទទួលពាក្យមាតារបស់សុទិន្នដ៏មានអាយុថា ចាស ម៉ែ ។ លំដាប់នោះ មាតារបស់សុទិន្នដ៏មានអាយុ ក៏នាំនាងបុរាណទុតិយិការបស់សុទិន្នដ៏មានអាយុចូលទៅកាន់ព្រៃមហាវ័នដែលសុទិន្នគង់នៅនោះឯង លុះចូលទៅហើយ ក៏បានពោលនូវពាក្យនេះនឹងសុទិន្នដ៏មានអាយុថា ម្នាលសុទិន្នកូន ត្រកូលនេះស្ដុកស្ដម្ភ មានទ្រព្យច្រើន មានរបស់សម្រាប់ប្រើប្រាស់ច្រើន មានមាសប្រាក់ច្រើន មានគ្រឿងឧបករណ៍ជាទីគាប់ចិត្តច្រើន មានធនធានស្រូវអង្ករច្រើន ម្នាលសុទិន្នកូន អ្នកត្រឡប់មកបើប្រហីនភេទ ក៏គង់នឹងបានបរិភោគនូវភោគសម្បត្តិផង ធ្វើបុណ្យទាំងឡាយផង ម្នាលសុទិន្នកូន អ្នកត្រូវត្រឡប់មកកាន់ភេទជាគ្រហស្ថវិញ ហើយបរិភោគនូវភោគសម្បត្តិផង

បុញ្ញានិ ករោហីតិ ។ អម្ម ន ឧស្សហាមិ ន វិសហាមិ អភិរតោ អហំ ព្រហ្មចរិយំ ចរាមីតិ ។ ទុតិយម្បិ ខោ ។ បេ ។ តតិយម្បិ ខោ អាយស្មតោ សុទិន្នស្ស មាតា អាយស្មន្តំ សុទិន្នំ ឯតទវោច ឥទំ តាត សុទិន្ន កុលំ អឌ្ឍំ មហទ្ធនំ មហាភោគំ បហូតជាតរូបរជតំ បហូតវិត្តូបករណំ បហូតធនធញ្ញំ តេនហិ តាត សុទិន្ន ពីជកម្បិ ទេហិ មា នោ អបុត្តកំ សាបតេយ្យំ លិច្ឆវយោ អតិហរាបេសុន្តិ ។ ឯតំ ខោ មេ អម្ម សក្កា កាតុន្តិ បុរាណទុតិយិកាយ ពាហាយំ គហេត្វា មហាវនំ អជ្ឈោគាហេត្វា អបញ្ញត្តេ សិក្ខាបទេ អនាទីនវទស្សោ បុរាណទុតិយិកាយ តិក្ខត្តុំ មេថុនំ ធម្មំ អភិវិញ្ញាបេសិ ។ សា តេន គព្ភំ គណ្ហិ ។

(១៨) ភុម្មា ទេវា សទ្ទមនុស្សាវេសុំ និរព្ពុទោ វត ភោ ភិក្ខុសង្ឃោ និរាទីនវោ សុទិន្នេន កលន្ទបុត្តេន អព្ពុទំ ឧប្បាទិតំ អាទីនវោ ឧប្បាទិតោតិ ។



ធ្វើបុណ្យទាំងឡាយចុះ ។ សុទិន្នតបថា ព្រោម អាត្មាសឹកមិនកើតទេ អាត្មាមិនព្រមសឹកទេ អាត្មាត្រេកអរនឹងប្រព្រឹត្តព្រហ្មចរិយធម៌ ។ មាតារបស់សុទិន្នដ៏មានអាយុ បាននិយាយនឹងសុទិន្នដ៏មានអាយុ អស់វារៈ ២-៣ ដងយ៉ាងនេះថា នែសុទិន្នកូន ត្រកូលនេះស្តុកស្តម្ភ មានទ្រព្យច្រើន មានភោគៈច្រើន មានមាសប្រាក់ច្រើន មានគ្រឿងឧបករណ៍ជាទីគាប់ចិត្តច្រើន មានធនធានស្រូវអង្ករច្រើន នែសុទិន្នកូន បើដូច្នោះ អ្នកចូរឲ្យត្រឹមតែពូជចុះ កុំឲ្យពួកលិច្ឆវីមករឹបយកសម្បត្តិទ្រព្យរបស់យើង ដែលជាត្រកូលឥតកូនទៅបាន ។ សុទិន្នឆ្លើយថា ព្រោម អាត្មាអាចធ្វើកិច្ចនេះដូចបាន ហើយក៏ចាប់ដៃនាងបុរាណទុតិយិកា នាំចូលទៅកាន់ព្រៃមហាវន យល់ឃើញថាមិនមានទោស ព្រោះសិក្ខាបទព្រះអង្គមិនទាន់បានបញ្ញត្ត ហើយញុំាងមេថុនធម្មឲ្យសម្រេចដោយនាងបុរាណទុតិយិកា អស់វារៈ ៣ ដង នាងក៏មានគភ៌ដោយមេថុនសេវនៈនោះ ។

(១៨) ភុម្មទេវតាទាំងឡាយ ក៏ញុំាងសំឡេងឲ្យឮដូចគ្នាឡើងថា ម្នាលអ្នកទាំងឡាយ ពួកភិក្ខុមិនដែលកើតរេ មិនដែលមានទោស (ត. ឬរនៈ) សុទិន្នកលន្ទបុត្រធ្វើសេចក្តីកើតទុំនិងទោសឲ្យកើតឡើងហើយ ។

ភុម្មានំ ទេវានំ សទ្ទំ សុត្វា ចាតុម្មហារាជិកា ទេវា សទ្ទមនុស្សាវេសុំ តាវតឹសា ទេវា យាមា ទេវា តុសិតា ទេវា និម្មានរតី ទេវា បរនិម្មិតវសវត្តី ទេវា ព្រហ្មកាយិកា ទេវា សទ្ទមនុស្សាវេសុំ និរព្វុទោ វត ភោ ភិក្ខុសង្ឃោ និរាទីនវោ សុទិន្នេន កលន្ទបុត្តេន អព្វុទំ ឧប្បាទិតំ អាទីនវោ ឧប្បាទិតោតិ ។ ឥតិហ តេន ខណេន តេន មុហុត្តេន យាវ ព្រហ្មលោកា សទ្ទោ អព្ភុគ្គញ្ឆិ ។ អថខោ អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកា តស្ស គព្ភស្ស បរិបាកមន្វាយ បុត្តំ វិជាយិ ។ អថខោ អាយស្មតោ សុទិន្នស្ស សហាយកា តស្ស ទារកស្ស ពីជកោតិ នាមំ អកំសុ អាយស្មតោ សុទិន្នស្ស បុរាណទុតិយិកាយ ពីជកមាតាតិ នាមំ អកំសុ អាយស្មតោ សុទិន្នស្ស ពីជកបិតាតិ នាមំ អកំសុ ។ តេ អបរេន សមយេន ឧភោ អគារស្មា អនគារិយំ បព្វជិត្វា អរហត្តំ សច្ឆាកំសុ ។



ចាតុម្មហារាជិកាទេវតាទាំងឡាយ ឮសំឡេងភុម្មទេវតាទាំងនោះហើយ ក៏ញុំាងសំឡេងឲ្យឮឡើងទៅ ពួកទេវតាជាន់តាវត្តិង្ស យាមា តុសិតា និម្មានរតី បរនិម្មិតវសវត្តី (ហៅគូបល់) ពួកព្រហ្ម (បានឮសំឡេងតៗគ្នាមកហើយ) ក៏ញុំាងសំឡេងឲ្យឮឡើងថាៗ ម្នាលគ្នាយើងទាំងឡាយ ពួកភិក្ខុមិនដែលកើត មិនដែលមានទោស (សព្វថ្ងៃនេះ) សុទិន្នកលន្ទបុត្រ មកញុំាងសេចក្ដីកើតនៃទោសឲ្យកើតឡើងហើយ ៗ សូរសព្ទ (យ៉ាងនេះ) ក៏ឮកងរំពងឡើងទៅដរាបដល់ព្រហ្មលោកដោយ ១ ខណៈ ១ពេលនោះឯង ។ គ្រានោះ នាងបុរាណទុតិយិការបស់សុទិន្នដ៏មានអាយុ អាស្រ័យគភ៌នោះគាប់តែចាស់ឡើងជាលំដាប់ ទើបសំរាលនូវកូនប្រុសមួយ ។ លំដាប់នោះ ពួកសំឡាញ់សុទិន្នដ៏មានអាយុ បានតាំងឈ្មោះទារកនោះថា ពីជក បានតាំងឈ្មោះនាងបុរាណទុតិយិការបស់សុទិន្នដ៏មានអាយុថា ពីជកមាតា បានតាំងឈ្មោះសុទិន្នមានអាយុថា ពីជកបិតា ។ លុះដល់សម័យខាងក្រោយមក អ្នកទាំងពីរនោះ បានចេញចាកផ្ទះហើយបួសក្នុងភេទជាបុគ្គលអ្នកមិនមានប្រយោជន៍ដល់ការនៃផ្ទះហើយបានធ្វើឲ្យជាក់ច្បាស់នូវព្រះអរហត្តផល ។

(១៩) អថខោ អាយស្មតោ សុទិន្នស្ស អហុទេវ
កុក្កុច្ចំ អហុ វិប្បដិសារោ អលាភា វត មេ ន វត
មេ លាភា ទុល្លទ្ធំ វត មេ ន វត មេ សុលទ្ធំ យោហំ
ឯវំ ស្វាក្ខាតេ ធម្មវិនយេ បព្វជិត្វា នាសក្ខឹ យាវជីវំ
បរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ ចរិតុំ ។ តស្ស តេនេវ
កុក្កុច្ចេន តេន វិប្បដិសារេន កិសោ អហោសិ
លូខោ ទុព្វណ្ណោ ឧប្បណ្ឌុប្បណ្ឌុកជាតោ ធមនិ-
សន្ថតគត្តោ អន្តោមនោ លីនមនោ ទុក្ខី ទុម្មនោ
វិប្បដិសារី បជ្ឈាយិ ។ អថខោ អាយស្មតោ សុទិន្នស្ស
សហាយកា ភិក្ខូ អាយស្មន្តំ សុទិន្នំ ឯតទវោចុំ
បុព្វេ ខោ ត្វំ អាវុសោ សុទិន្ន វណ្ណវា អហោសិ
បីណិន្ទ្រិយោ បសន្នមុខវណ្ណោ វិប្បសន្នឆវិវណ្ណោ
បរិយោទាតោ សោ ទានិ ត្វំ ឯតរហិ កិសោ លូខោ
ទុព្វណ្ណោ ឧប្បណ្ឌុប្បណ្ឌុកជាតោ ធមនិសន្ថតគត្តោ



(១៩) គ្រានោះ សេចក្តីសង្ស័យនិងសេចក្តីក្តៅក្រហាយស្តាយ
ក្រោយ ក៏កើតមានដល់សុទិន្នដ៏មានអាយុថា អាត្មាអញពេញទៅ
ជាឥតលាភ លាភមិនមានដល់អាត្មាអញទេ ភាពជាមនុស្ស ពេញ
ទៅអាត្មាអញបានដោយក្រ មិនមែនអាត្មាអញ បានដោយល្អទេ
ដោយហេតុអាត្មាអញ បានបួសក្នុងធម្មវិន័យ ដែលព្រះសាស្តាទ្រង់
សំដែងដោយប្រពៃយ៉ាងនេះ ហើយមិនអាចដើម្បីប្រព្រឹត្តព្រហ្មចរិយធម៌
ឲ្យបរិបូណ៌ បរិសុទ្ធ ដរាបដល់អស់ជីវិត ។ ព្រោះសេចក្តីសង្ស័យនិង
សេចក្តីក្តៅក្រហាយស្តាយក្រោយនោះឯង សុទិន្នក៏ទៅជាស្គមស្រពន់ហង
សម្បុរក្រៀមក្រំកើតទៅជាពពាលឿងស្លេកស្លាំង មានខ្លួនរាំងរៃដោយសរសៃ
មានចិត្តក្រៀមក្រំទ្រមឺងទ្រមើយ កើតទុក្ខតូចចិត្តនឹកស្តាយក្រោយសញ្ជប់
សញ្ជឹង ។ លំដាប់នោះ ភិក្ខុទាំងឡាយជាសំឡាញ់របស់សុទិន្នដ៏មាន
អាយុបាននិយាយពាក្យនេះនឹងសុទិន្នដ៏មានអាយុថា អាវុសោសុទិន្ន កាល
ពីដើមលោកមានសម្បុរល្អ មានឥន្ទ្រិយពេញលេញ មានសម្បុរមុខថ្លា
មានសម្បុរផ្ទៃស្រស់បស់ផូរផង់ល្អ ឥឡូវនេះលោកទៅជាស្គមសៅស្លាំង
មានសម្បុរក្រៀមក្រំ កើតពពាលឿងស្លេកស្លាំង មានខ្លួនរាំងរៃដោយសរសៃ

អន្តោមនោ លីនមនោ ទុក្ខី ទុម្មនោ វិប្បដិសារី បជ្ឈាយសិ កច្ចិ នោ ត្វំ អាវុសោ សុទិន្ន អនភិរតោ ព្រហ្មចរិយំ ចរសីតិ ។ ន ខោ អហំ អាវុសោ អនភិរតោ ព្រហ្មចរិយំ ចរាមិ អត្ថិ មេ បាបកម្មំ[១] កតំ បុរាណទុតិយិកាយ មេថុនោ ធម្មោ បដិសេវិតោ តស្ស មយ្ហំ អាវុសោ អហុទេវ កុក្កុច្ចំ អហុ វិប្បដិសារោ អលាភា វត មេ ន វត មេ លាភា ទុល្លទ្ធំ វត មេ ន វត មេ សុលទ្ធំ យោហំ ឯវំ ស្វាក្ខាតេ ធម្មវិនយេ បព្វជិត្វា នាសក្ខឹ យាវជីវំ បរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ ចរិតុន្តិ ។ អលំ ហិ តេ អាវុសោ សុទិន្ន កុក្កុច្ចាយ អលំ វិប្បដិសារាយ យំ ត្វំ ឯវំ ស្វាក្ខាតេ ធម្មវិនយេ បព្វជិត្វា ន សក្ខិស្សសិ យាវជីវំ បរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ ចរិតុំ

១ ឱ. បាបំ កម្មំ ។ ម. បាបកំ ។



មានចិត្តក្រៀមក្រំ ទ្រមឹងទ្រមើយ កើតទុក្ខទួចចិត្តក្តៅក្រហាយសញ្ជប់ សញ្ជឹង ម្នាលអាវុសោសុទិន្ន លោកមិនសប្បាយត្រេកអរហើយទេ ដែលប្រព្រឹត្តព្រហ្មចរិយធម៌ទៅទេឬអ្វី ។ សុទិន្នឆ្លើយតបថា នែលោកដ៏មានអាយុទាំងឡាយ ខ្ញុំមិនមែនមិនត្រេកអរហើយទេ ដែលនឹងប្រព្រឹត្តព្រហ្មចរិយធម៌ទេ ខ្ញុំបានធ្វើបាបកម្មគឺសេពមេថុនធម្មនឹងស្រីបុរាណទុតិយិកា ម្នាលអាវុសោទាំងឡាយ សេចក្តីសង្ស័យនឹងសេចក្តីស្តាយក្រោយក៏កើតមានដល់ខ្ញុំនោះឯងថា ឱអញពេញហៅជាឥតលាភ លាភមិនមានដល់អាត្មាអញទេ ភាពជាមនុស្សពេញហៅអាត្មាអញបានដោយក្រក់ មិនមែនអាត្មាអញបានដោយល្អទេ ដោយហេតុអាត្មាអញបានបួសក្នុងធម្មវិន័យ ដែលព្រះសាស្តាទ្រង់សំដែងដោយប្រពៃយ៉ាងនេះ ហើយមិនអាចដើម្បីប្រព្រឹត្តព្រហ្មចរិយធម៌ ឲ្យបរិបូណ៌ បរិសុទ្ធ ដរាបដល់អស់ជីវិត ។ ភិក្ខុទាំងឡាយជាសំឡាញ់ក៏និយាយថា អាវុសោសុទិន្ន លោកបួសក្នុងធម្មវិន័យ ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងល្អហើយយ៉ាងនេះ មិនអាចដើម្បីប្រព្រឹត្តព្រហ្មចរិយធម៌ ឲ្យបរិសុទ្ធពេញលេញ ដរាបដល់អស់ជីវិតបាន ព្រោះមេថុនធម្មសេវនកិច្ចណា

ននុ អាវុសោ ភគវតា អនេកបរិយាយេន វិរាគាយ ធម្មោ ទេសិតោ នោ សរាគាយ វិសំយោគាយ ធម្មោ ទេសិតោ នោ សំយោគាយ អនុបាទានាយ ធម្មោ ទេសិតោ នោ សឧបាទានាយ តត្ថ នាម ត្វំ អាវុសោ ភគវតា វិរាគាយ ធម្មេ ទេសិតេ សរាគាយ ចេតេស្សសិ វិសំយោគាយ ធម្មេ ទេសិតេ សំយោគាយ ចេតេស្សសិ អនុបាទានាយ ធម្មេ ទេសិតេ សឧបាទានាយ ចេតេស្សសិ ននុ អាវុសោ ភគវតា អនេកបរិយាយេន រាគវិរាគាយ ធម្មោ ទេសិតោ មទនិម្មទនាយ





ម្នាលអាវុសោ មេថុនធម្មសៅហ្មងនោះ ល្មមឲ្យលោកសង្រួម ល្មមឲ្យស្តាយក្រោយមែន ម្នាលអាវុសោ ធម៌ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងហើយដោយអនេកបរិយាយ (សូត្រ) ដើម្បីឲ្យប្រាសចាករាគៈមិនមែនសំដែងដើម្បីឲ្យប្រកបដោយរាគៈទេ ធម៌ដែលព្រះអង្គសំដែងហើយ ដើម្បីឲ្យប្រាសចាកកិលេសជាគ្រឿងប្រកប មិនមែនសំដែងដើម្បីភ្ជាប់ទៅរកកិលេសជាគ្រឿងប្រកបទេ ធម៌ដែលព្រះអង្គសំដែងហើយ ដើម្បីមិនឲ្យប្រកាន់មាំ មិនមែនសំដែងដើម្បីឲ្យប្រកាន់មាំទេ (ក្រែងមួយចុះ) មិនមែនឬ នែអាវុសោ ត្រង់ធម៌ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងហើយ ដើម្បីឲ្យប្រាសចាករាគៈ លោកត្រឡប់ជាយល់ក្នុងធម៌នោះថាប្រកបដោយរាគៈទៅវិញ ត្រង់ធម៌ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងហើយ ដើម្បីឲ្យប្រាសចាកកិលេសជាគ្រឿងប្រកប លោកត្រឡប់ជាចូលចិត្តភ្ជាប់ទៅរកកិលេសជាគ្រឿងប្រកបទៅវិញ ត្រង់ធម៌ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងហើយ ដើម្បីមិនឲ្យប្រកាន់មាំ លោកទៅជាចូលចិត្តជាឲ្យប្រកាន់មាំវិញ ម្នាលអាវុសោ ធម៌ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងហើយដោយអនេកបរិយាយ ដើម្បីប្រាសចាករាគៈ ធម៌ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងហើយ ដើម្បីញាំញីនូវសេចក្តីស្រវឹង

បិបាសវិនយាយ អាលយសមុគ្ឃាតាយ វដ្ដុបច្ឆេទាយ តណ្ហក្ខយាយ វិរាគាយ និរោធាយ និព្វានាយ ធម្មោ ទេសិតោ ននុ អាវុសោ ភគវតា អនេកបរិយាយេន កាមានំ បហានំ អក្ខាតំ កាមសញ្ញានំ បរិញ្ញា អក្ខាតា កាមបិបាសានំ បដិវិនយោ អក្ខាតោ កាម-វិតក្កានំ សមុគ្ឃាតោ អក្ខាតោ កាមបរិឡាហានំ វូប-សមោ អក្ខាតោ នេតំ អាវុសោ អប្បសន្នានំ វា បសាទាយ បសន្នានំ វា ភិយ្យោភាវាយ អថខ្វេតំ អាវុសោ អប្បសន្នានញ្ចេវ អប្បសាទាយ បសន្នានញ្ច ឯកច្ចានំ អញ្ញថត្តាយាតិ ។ អថខោ តេ ភិក្ខូ អាយស្មន្តំ សុទិន្នំ អនេកបរិយាយេន វិគរហិត្វា ភគវតោ ឯតមត្ថំ អារោចេសុំ ។



ដើម្បីកំចាត់បង់នូវសេចក្ដីស្រេកឃ្លានក្នុងកាម ដើម្បីដកចេញនូវសេចក្ដីអាល័យក្នុងកាម ដើម្បីផ្ដាច់បង់នូវវដ្ដៈ ដើម្បីអស់ទៅនៃតណ្ហា ដើម្បីប្រាសចាករាគៈ ដើម្បីនិរោធ ដើម្បីព្រះនិព្វាន (ប្រែថាផុតទុក្ខ) មិនមែនឬ ម្នាលអាវុសោ កិរិយាលះបង់នូវកាមទាំងឡាយ ព្រះដ៏មានព្រះភាគទ្រង់សំដែងហើយ ការកំណត់ដឹងនូវសេចក្ដីសំគាល់ក្នុងកាម ព្រះអង្គក៏បានសំដែងហើយ កិរិយាកំចាត់បង់នូវសេចក្ដីស្រេកឃ្លានក្នុងកាម ព្រះអង្គក៏បានសំដែងហើយ កិរិយាដកចេញនូវសេចក្ដីត្រិះរិះក្នុងកាមទាំងឡាយ ក៏ព្រះអង្គបានសំដែងហើយ កិរិយារម្ងាប់នូវសេចក្ដីក្ដៅក្រហាយអន្ទះអន្ទែងក្នុងកាមទាំងឡាយ ក៏ព្រះអង្គបានសំដែងហើយ ដោយអនេក-បរិយាយ (យ៉ាងនេះ) មិនមែនឬ ម្នាលអាវុសោ កម្មដ៏លាមករបស់លោកនេះ មិនមែននាំឲ្យកើតសេចក្ដីជ្រះថ្លាដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លានោះទេ មិនមែននាំជនដែលជ្រះថ្លាហើយ ឲ្យរឹតតែជ្រះថ្លាឡើងទេ ម្នាលអាវុសោ កម្មដ៏លាមករបស់លោកនេះ រមែងនាំសេចក្ដីមិនជ្រះថ្លា ឲ្យកើតមានដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លាទៅឡើយ នាំជនទាំងឡាយខ្លះដែលជ្រះថ្លាហើយឲ្យប្រែចិត្តគំនិតទៅវិញទេតើ លំដាប់នោះ ភិក្ខុទាំងនោះក៏តិះដៀលសុទិន្នដ៏មានអាយុដោយអនេកបរិ-យាយ ហើយនាំគ្នាក្រាបទូលនូវសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។

[៦០] អថខោ ភគវា ឯតស្មឹ និទានេ ឯតស្មឹ បករណេ ភិក្ខុសង្ឃំ សន្និបាតាបេត្វា អាយស្មន្តំ សុទិន្នំ បដិបុច្ឆិ សច្ចំ កិរ ត្វំ សុទិន្ន បុរាណទុតិយិកាយ មេថុនំ ធម្មំ បដិសេវីតិ(១) ។ សច្ចំ ភគវាតិ ។ វិគរហិ ពុទ្ធោ ភគវា អននុច្ឆវិកំ(២) មោឃបុរិស អននុលោមិកំ អប្បតិរូបំ អស្សាមណកំ អកប្បិយំ អករណីយំ កថំ ហិ នាម ត្វំ មោឃបុរិស ឯវំ ស្វាក្ខាតេ ធម្មវិនយេ បព្វជិត្វា ន សក្ខិស្សសិ យាវជីវំ បរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ ចរិតុំ ននុ មយា មោឃបុរិស អនេកបរិយាយេន វិរាគាយ ធម្មោ ទេសិតោ នោ សរាគាយ វិសំយោគាយ ធម្មោ ទេសិតោ នោ សំយោគាយ អនុបាទានាយ ធម្មោ ទេសិតោ នោ សឧបាទានាយ តត្ថ នាម ត្វំ មោឃបុរិស មយា វិរាគាយ ធម្មេ ទេសិតេ សរាគាយ ចេតេស្សសិ វិសំយោគាយ ធម្មេ ទេសិតេ

១ ឱ. បដិសេវីតិ ។ ២ យោគុយ្យេន អននុច្ឆវិកន្តិ បាឋោ ទិស្សតិ ។



(៦០) គ្រានោះឯង ព្រោះដំណើរនេះ ព្រះដ៏មានព្រះភាគ ទ្រង់ឲ្យប្រជុំភិក្ខុសង្ឃ ហើយត្រាស់សួរសុទិន្នដ៏មានអាយុក្នុងកាលនោះថា នែសុទិន្ន ឮថាអ្នកឯងសេពមេថុនធម្មនឹងនាងបុរាណទុតិយិកា ពិតមែនឬ ។ សុទិន្នក្រាបទូលថា សូមតាន ពិតមែន ។ ព្រះសម្ពុទ្ធដ៏មានព្រះភាគ ទ្រង់តិះដៀលថា នែមោឃបុរស ទង្វើដែលអ្នកឯងធ្វើនេះមិនសមគួរ មិនត្រូវទំនង មិនត្រូវបែប មិនមែនជារបស់សមណៈ មិនគប្បី មិនគួរធ្វើទេ នែមោឃបុរស គួរបើដែរ អ្នកឯងបួសក្នុងធម្មវិន័យដែលតថាគតសំដែងហើយដោយប្រពៃយ៉ាងនេះ ក្រែង នៅជាប្រព្រឹត្តព្រហ្មចរិយធម៌ឲ្យបរិសុទ្ធ ពេញលេញរហូតអស់ជីវិតមិនកើត នែមោឃបុរស ធម៌ដែលតថាគតសំដែងហើយដោយអនេកបរិយាយ (សូត្រ) ដើម្បីប្រាសចាករាគៈ មិនមែនដើម្បីប្រកបដោយរាគៈទេ ធម៌ដែលតថាគតសំដែងហើយ ដើម្បីឲ្យប្រាសចាកកិលេសជាគ្រឿងប្រកប មិនមែនសំដែងដើម្បីកម្រើកកិលេសជាគ្រឿងប្រកបទេ ធម៌ដែលតថាគតសំដែងហើយ ដើម្បីមិនឲ្យប្រកាន់មាំ មិនមែនសំដែងដើម្បីឲ្យប្រកាន់មាំទេ មិនមែនឬ នែមោឃបុរស គ្រាដែលធម៌ដែលតថាគតសំដែងហើយ ដើម្បីឲ្យប្រាសចាករាគៈ អ្នកឯងត្រឡប់ចូលចិត្តក្នុងធម៌នោះដើម្បីឲ្យប្រកបដោយរាគៈវិញ គ្រាដែលធម៌ដែលតថាគតសំដែងហើយ ដើម្បីឲ្យប្រាសចាកកិលេសជាគ្រឿងប្រកប

សំយោគាយ ចេតេស្សសិ អនុបាទានាយ ធម្មេ ទេសិតេ សឧបាទានាយ ចេតេស្សសិ ននុ មយា មោឃបុរិស អនេកបរិយាយេន រាគវិរាគាយ ធម្មោ ទេសិតោ មទនិម្មទនាយ បិបាសវិនយាយ អាលយសមុគ្ឃាតាយ វដ្ដុបច្ឆេទាយ តណ្ហក្ខយាយ វិរាគាយ និរោធាយ និព្វានាយ ធម្មោ ទេសិតោ ននុ មយា មោឃបុរិស អនេកបរិយាយេន កាមានំ បហានំ អក្ខាតំ កាមសញ្ញានំ បរិញ្ញា អក្ខាតា កាមបិបាសានំ បដិវិនយោ អក្ខាតោ កាមវិតក្កានំ សមុគ្ឃាតោ អក្ខាតោ កាមបរិឡាហានំ វូបសមោ អក្ខាតោ វរន្តេ មោឃបុរិស អាសីវិសស្ស ឃោរវិសស្ស មុខេ អង្គជាតំ បក្ខិត្តំ ន ត្វេវ មាតុគាមស្ស អង្គជាតេ អង្គជាតំ បក្ខិត្តំ



អ្នកឯង ត្រឡប់ជាប្ដូរចិត្តមា ឲ្យប្រកបដោយកិលេសជាគ្រឿងប្រកបវិញ ត្រង់ធម៌ដែលតថាគតសំដែងហើយ ដើម្បីមិនឲ្យប្រកាន់មាំ អ្នកឯងត្រឡប់ទៅជាចូលចិត្តជាឲ្យប្រកាន់មាំវិញ នែមោឃបុរស ធម៌ដែលតថាគតសំដែងហើយដោយអនេកបរិយាយ ដើម្បីឲ្យប្រាសចាករាគៈ ធម៌ដែលតថាគតសំដែងហើយ ដើម្បីញាំញីនូវសេចក្ដីស្រវឹង ដើម្បីកំចាត់បង់នូវសេចក្ដីស្រេកឃ្លានក្នុងកាម ដើម្បីដកចេញនូវសេចក្ដីអាល័យក្នុងកាម ដើម្បីផ្ដាច់បង់នូវវដ្ដៈ ដើម្បីអស់ទៅនៃតណ្ហា ដើម្បីប្រាសចាកតម្រេក ដើម្បីរលត់ ដើម្បីព្រះនិព្វាន មិនមែនទេឬ នែមោឃបុរស ការលះបង់នូវកាមទាំងឡាយ តថាគតបានសំដែងហើយ ការកំណត់ដឹងនូវសេចក្ដីសំគាល់ក្នុងកាមទាំងឡាយ តថាគតបានសំដែងហើយ ការកំចាត់បង់នូវសេចក្ដីស្រេកឃ្លានក្នុងកាមទាំងឡាយ តថាគតបានសំដែងហើយ ការដកចេញនូវសេចក្ដីត្រិះរិះក្នុងកាមទាំងឡាយ តថាគតបានសំដែងហើយ ការចូលទៅរម្ងាប់នូវសេចក្ដីក្ដៅក្រហាយក្នុងកាមទាំងឡាយ តថាគតបានសំដែងហើយ ដោយអនេកបរិយាយ មិនមែនទេឬ ម្នាលមោឃបុរស អ្នកឯងដាក់អង្គជាតទៅក្នុងមាត់អាសិរពិសជាសត្វមានពិសក្លៀវក្លា ប្រសើរជាងអ្នកឯងដាក់អង្គជាតទៅក្នុងអង្គជាត

វរន្តេ មោឃបុរិស កណ្ហសប្បស្ស មុខេ អង្គជាតំ បក្ខិត្តំ ន ត្វេវ មាតុគាមស្ស អង្គជាតេ អង្គជាតំ បក្ខិត្តំ វរន្តេ មោឃបុរិស អង្គារកាសុយា អាទិត្តាយ សម្បជ្ជលិតាយ សជោតិភូតាយ(១) អង្គជាតំ បក្ខិត្តំ ន ត្វេវ មាតុគាមស្ស អង្គជាតេ អង្គជាតំ បក្ខិត្តំ តំ កិស្ស ហេតុ តតោនិទានំ ហិ មោឃបុរិស មរណំ វា និគច្ឆេយ្យ មរណមត្តំ វា ទុក្ខំ ន ត្វេវ តប្បច្ចយា កាយស្ស ភេទា បរំ មរណា អបាយំ ទុគ្គតឹ វិនិបាតំ និរយំ ឧបបជ្ជេយ្យ ឥតោនិទានញ្ច ខោ មោឃបុរិស កាយស្ស ភេទា បរំ មរណា អបាយំ ទុគ្គតឹ វិនិបាតំ និរយំ ឧបបជ្ជេយ្យ តត្ថ នាម ត្វំ មោឃបុរិស យំ ត្វំ អសទ្ធម្មំ គាមធម្មំ វសលធម្មំ ទុដ្ឋុល្លំ ឱទកន្តិកំ រហស្សំ ទ្វយំ ទ្វយសមាបត្តឹ សមាបជ្ជិស្សសិ ពហូនំ

១ យោកុយោ្យន សជោតិភូតាយាតិ បាឋោ ទិស្សតិ ។



របស់មាតុគ្រាមមិនប្រសើរឡើយ មោឃបុរស អ្នកឯងដាក់អង្គជាតទៅក្នុងមាត់ពស់វែកប្រសើរជាង អង្គជាតដែលអ្នកឯងដាក់ទៅក្នុងអង្គជាតរបស់មាតុគ្រាមមិនប្រសើរឡើយ មោឃបុរស អ្នកឯងដាក់អង្គជាតទៅក្នុងគំនររងើកភ្លើងដែលឆេះភ្លឺព្រាលព្រោលប្រសើរជាង អង្គជាតដែលអ្នកដាក់ទៅក្នុងអង្គជាតរបស់មាតុគ្រាមមិនប្រសើរឡើយ ហេតុអ្វី បានជាតថាគតពោលដូច្នោះ មោឃបុរស ព្រោះថាមនុស្សដែលដាក់អង្គជាតទៅក្នុងគំនររងើកភ្លើង គ្រាន់តែដល់នូវសេចក្តីស្លាប់ឬដល់នូវសេចក្តីទុក្ខប្រហែលនឹងស្លាប់ប៉ុណ្ណោះ ឯមិនបានទំលាយកាយស្លាប់ហើយ ទៅកើតក្នុងតិរច្ឆានកំណើត ប្រេត អសុរកាយ នរក ព្រោះបច្ច័យដែលដាក់អង្គជាតទៅក្នុងគំនររងើកភ្លើងនោះក៏ទេ តែមោឃបុរស ចំណែកខាងនេះគឺដែលដាក់អង្គជាតទៅក្នុងអង្គជាតរបស់មាតុគ្រាមនោះ តែងទំលាយកាយហើយត្រូវទៅកើតក្នុងតិរច្ឆានកំណើត ប្រេត អសុរកាយ នរក ម្នាលមោឃបុរស កាលបើកម្មទាំងនោះ (សូម្បីតែជាកម្មប្រកបដោយទោសដ៏ធំយ៉ាងនេះ) អ្នកឯងនៅតែប្រព្រឹត្តនូវអសទ្ធម្មជាធម៌របស់អ្នកស្រុក ជាធម៌របស់មនុស្សថោកថយ ក្រក់ មានកិច្ចដោយទឹកជាទីបំផុត ជាធម៌លាក់លៀម ជាធម៌របស់ជនពីរៗនាក់ គឺដែលប្រជុំធ្វើតាមតែប្រទះនោះ មោឃបុរស (ក្នុងសាសនានេះ) មានតែអ្នកឯងហើយជាអ្នកធ្វើកុសល

តោ ត្វំ មោឃបុរិស អកុសលានំ ធម្មានំ អាទិកត្តា បុព្វង្គមោ ។ នេតំ មោឃបុរិស អប្បសន្នានំ វា បសាទាយ បសន្នានំ វា ភិយ្យោភាវាយ អថខ្វេតំ មោឃបុរិស អប្បសន្នានញ្ចេវ អប្បសាទាយ បសន្នានញ្ច ឯកច្ចានំ អញ្ញថត្តាយាតិ ។ អថខោ ភគវា អាយស្មន្តំ សុទិន្នំ អនេកបរិយាយេន វិគរហិត្វា ទុព្ភរតាយ ទុប្បោសតាយ មហិច្ឆតាយ អសន្តុដ្ឋតាយ សង្គណិកាយ កោសជ្ជស្ស អវណ្ណំ ភាសិត្វា អនេកបរិយាយេន សុភរតាយ សុបោសតាយ អប្បិច្ឆស្ស សន្តុដ្ឋស្ស សល្លេខស្ស ធុតស្ស បាសាទិកស្ស អបចយស្ស វីរិយារម្ភស្ស វណ្ណំ ភាសិត្វា ភិក្ខូនំ តទនុច្ឆវិកំ តទនុលោមិកំ ធម្មឹ កថំ កត្វា ភិក្ខូ អាមន្តេសិ តេនហិ ភិក្ខវេ ភិក្ខូនំ សិក្ខាបទំ បញ្ញាបេស្សាមិ ទស អត្ថវសេ បដិច្ច



ជាន់ដើមនៃអកុសលធម៌ទាំងឡាយមានប្រមាណច្រើន ហៅថាជាអ្នកផ្ដើមធ្វើមុនគេ ម្នាលមោឃបុរស កម្មដ៏លាមករបស់អ្នកឯងនេះ មិនបណ្ដាលឲ្យកើតសេចក្ដីជ្រះថ្លាដល់ជនទាំងឡាយ ដែលមិនទាន់ជ្រះថ្លាឡើយ មិនមែនដឹកនាំជនដែលជ្រះថ្លាហើយឲ្យរឹតតែជ្រះថ្លាថែមឡើងទៀតទេ ម្នាលមោឃបុរស កម្មដ៏លាមករបស់អ្នកឯងនេះ រមែងបណ្ដាលឲ្យកើតសេចក្ដីមិនជ្រះថ្លា ដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លានៅឡើយ ដឹកនាំជនទាំងឡាយខ្លះដែលជ្រះថ្លាហើយ ឲ្យត្រឡប់ទាស់ចិត្តគំនិតទៅវិញ ។ គ្រានោះ ព្រះដ៏មានព្រះភាគ ទ្រង់តិះដៀលសុទិន្នដ៏មានអាយុ ដោយអនេកបរិយាយ ហើយទ្រង់សំដែងទោសនៃការចិញ្ចឹមក្រ ថែរក្សាក្រ ប្រាថ្នាច្រើន មិនសន្ដោស ច្រឡូកច្រឡំដោយពួកគណៈ នឹងសេចក្ដីខ្ជិលច្រអូស រួចទ្រង់សំដែងដោយអនេកបរិយាយនូវគុណនៃការដែលគេចិញ្ចឹមងាយ ការដែលគេថែរក្សាងាយ ប្រាថ្នាតិច សន្ដោស ចិត្តឋិតថេរ ការកំចាត់បង់នូវកិលេស ការនាំឲ្យកើតសេចក្ដីជ្រះថ្លា ការមិនសន្សំ នឹងការប្រារព្ធព្យាយាម ហើយទ្រង់សំដែងធម្មីកថាដ៏ល្មមសមគួរ ដល់សភាពនោះ ដល់សំរបនោះចំពោះភិក្ខុទាំងឡាយ ហើយហៅភិក្ខុទាំងឡាយមក (ពោលព្រះពុទ្ធដីកា) ថា ម្នាលភិក្ខុទាំងឡាយ បើដូច្នោះ តថាគតនឹងបញ្ញត្តសិក្ខាបទដល់ភិក្ខុទាំងឡាយ ព្រោះអាស្រ័យអំណាចប្រយោជន៍ ១០ យ៉ាង

សង្ឃសុដ្ឋុតាយ សង្ឃផាសុតាយ ទុម្មង្កូនំ បុគ្គលានំ និគ្គហាយ បេសលានំ ភិក្ខូនំ ផាសុវិហារាយ ទិដ្ឋធម្មិកានំ អាសវានំ សំវរាយ សម្បរាយិកានំ អាសវានំ បដិឃាតាយ អប្បសន្នានំ បសាទាយ បសន្នានំ ភិយ្យោភាវាយ សទ្ធម្មដ្ឋិតិយា វិនយានុគ្គហាយ ឯវញ្ច បន ភិក្ខវេ ឥមំ សិក្ខាបទំ ឧទ្ទិសេយ្យាថ យោ បន ភិក្ខុ មេថុនំ ធម្មំ បដិសេវេយ្យ បារាជិកោ ហោតិ អសំវាសោតិ ។ ឯវញ្ចិទំ ភគវតា ភិក្ខូនំ សិក្ខាបទំ បញ្ញត្តំ ហោតិ ។

សុទិន្នភាណវារំ និដ្ឋិតំ ។

(២១) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ វេសាលិយំ មហាវនេ មក្កដឹ អាមិសេន ឧបលាបេត្វា តស្សា មេថុនំ ធម្មំ បដិសេវតិ ។ អថ ខោ សោ ភិក្ខុ បុព្វណ្ហសមយំ និវាសេត្វា បត្តចីវរមាទាយ វេសាលឹ បិណ្ឌាយ បាវិសិ ។ តេន ខោ បន សមយេន សម្ពហុលា ភិក្ខូ សេនាសនចារិកំ អាហិណ្ឌន្តា យេន តស្ស ភិក្ខុនោ វិហារោ តេនុបសង្កមឹសុ ។



គឺដើម្បីសេចក្ដីល្អដល់សង្ឃ១ ដើម្បីនៅសប្បាយដល់សង្ឃ១ ដើម្បីសង្កត់សង្កិននូវបុគ្គលកំរោលទាំងឡាយដែលមិនអៀនខ្មាស១ ដើម្បីនៅជាសុខស្រួលដល់ភិក្ខុទាំងឡាយដែលមានសីលជាទីស្រឡាញ់១ ដើម្បីកំចាត់អាសវៈទាំងឡាយក្នុងបច្ចុប្បន្ន១ ដើម្បីកំចាត់បង់នូវអាសវៈទាំងឡាយក្នុងបរលោក១ ដើម្បីញុំាងបុគ្គលទាំងឡាយ ដែលមិនទាន់ជ្រះថ្លាឲ្យជ្រះថ្លាឡើង១ ដើម្បីញុំាងបុគ្គលទាំងឡាយដែលជ្រះថ្លាហើយ ឲ្យរឹតតែជ្រះថ្លាច្រើនឡើង១ ដើម្បីឲ្យដំកល់នៅមាំនៃព្រះសទ្ធម្ម១ ដើម្បីអនុគ្រោះដល់វិន័យ១ ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយត្រូវសំដែងនូវសិក្ខាបទនេះយ៉ាងនេះថា ភិក្ខុណាមួយសេពមេថុនធម្ម (ភិក្ខុនោះ) ត្រូវអាបត្តិបារាជិក រកសំវាសគ្មាន ។ សិក្ខាបទនេះ ព្រះដ៏មានព្រះភាគទ្រង់បញ្ញត្តហើយចំពោះភិក្ខុទាំងឡាយ ដោយប្រការយ៉ាងនេះ ។

ភាណវារៈពោលអំពីរឿងសុទិន្នភិក្ខុ ចប់ ។

(២១) សម័យនោះ មានភិក្ខុ១រូប ប្រលោមលួងមេស្វា ដោយអាមិសៈ ក្នុងព្រៃមហាវ័ន ទៀបក្រុងវេសាលី ហើយសេពមេថុនធម្មនឹងមេស្វានោះ ។ លំដាប់នោះ ភិក្ខុនោះស្លៀកស្បង់ប្រដាប់ដោយបាត្រនិងចីវរ ហើយចូលទៅកាន់ក្រុងវេសាលី ដើម្បីបិណ្ឌបាតក្នុងវេលាព្រឹកព្រហាម ។ ក្នុងសម័យនោះ ភិក្ខុទាំងឡាយច្រើនរូបដើរទៅកាន់សេនាសនចារិក ក៏នាំគ្នាចូលទៅត្រង់កន្លែងដែលភិក្ខុនោះនៅ ។

អទ្ទសា ខោ សា មក្កដី តេ ភិក្ខូ ទូរតោ វ អាគច្ឆន្តេ ទិស្វាន យេន តេ ភិក្ខូ តេនុបសង្កមិ ឧបសង្កមិត្វា តេសំ ភិក្ខូនំ បុរតោ កដឹបិ ចាលេសិ ឆេប្បំបិ ចាលេសិ កដឹបិ ឱឌ្ឌិ និមិត្តំបិ អកាសិ ។ អថខោ តេសំ ភិក្ខូនំ ឯតទហោសិ និស្សំសយំ ខោ សោ ភិក្ខុ ឥមិស្សា មក្កដិយា មេថុនំ ធម្មំ បដិសេវតីតិ ឯកមន្តំ និលីយឹសុ ។ អថខោ សោ ភិក្ខុ វេសាលិយំ បិណ្ឌាយ ចរិត្វា បិណ្ឌបាតំ អាទាយ បដិក្កមិ ។ អថខោ សា មក្កដី យេន សោ ភិក្ខុ តេនុបសង្កមិ ។ អថខោ សោ ភិក្ខុ តំ បិណ្ឌបាតំ ឯកទេសំ ភុញ្ជិត្វា ឯកទេសំ តស្សា មក្កដិយា អទាសិ ។ អថខោ សា មក្កដី តំ បិណ្ឌបាតំ[១] ភុញ្ជិត្វា តស្ស ភិក្ខុនោ កដឹ ឱឌ្ឌិ ។ អថខោ សោ ភិក្ខុ តស្សា មក្កដិយា មេថុនំ ធម្មំ បដិសេវតិ ។ អថខោ តេ ភិក្ខូ តំ ភិក្ខុំ ឯតទវោចុំ ននុ អាវុសោ ភគវតា សិក្ខាបទំ បញ្ញត្តំ កិស្ស ត្វំ អាវុសោ មក្កដិយា[២] មេថុនំ ធម្មំ បដិសេវសីតិ ។ សច្ចំ អាវុសោ ភគវតា សិក្ខាបទំ

* ១. ធំ បិណ្ឌំ ។ ២ [illegible] ។



មេស្វានោះ បានឃើញភិក្ខុអស់នោះមកអំពីចម្ងាយ ក៏ចូលទៅរក កន្លែងដែលភិក្ខុទាំងនោះនៅ លុះចូលទៅដល់ហើយ (ក៏សំដែងអាការ) ធ្វើចង្កេះឲ្យញាក់ញ័រផង ធ្វើកន្ទុយឲ្យកំរើកផង បើកចង្កេះផង បានធ្វើនូវនិមិត្តផង ក្នុងទីចំពោះមុខភិក្ខុទាំងឡាយនោះ ។ គ្រានោះ ភិក្ខុទាំងនោះ មានសេចក្ដីត្រិះរិះយ៉ាងនេះថា ភិក្ខុនោះសេពមេថុនធម្មនឹងមេស្វានេះ ដោយពិតឥតមានសង្ស័យ ទើបនាំគ្នាពួនលាក់នៅក្នុងទីកំបាំង ១ ។ លំដាប់នោះ ភិក្ខុនោះដើរទៅបិណ្ឌបាតក្នុងក្រុងវេសាលី បានបិណ្ឌបាតហើយត្រឡប់មកវិញ ។ គ្រានោះ មេស្វានោះក៏ចូលទៅរកកន្លែងដែលភិក្ខុនោះនៅ ។ លំដាប់នោះ ភិក្ខុនោះ នាំបិណ្ឌបាតនោះមួយចំណែក បានឲ្យដល់មេស្វាមួយចំណែក ។ គ្រានោះ មេស្វាស៊ីអាហារបិណ្ឌបាតនោះហើយ ក៏បើកចង្កេះចំពោះទៅភិក្ខុនោះ ។ លំដាប់នោះ ភិក្ខុនោះ ក៏សេពមេថុនធម្មនឹងមេស្វានោះ ។ ទើបភិក្ខុទាំងឡាយនោះ បានពោលពាក្យនេះនឹងភិក្ខុនោះថា អាវុសោ សិក្ខាបទ ព្រះដ៏មានព្រះភាគទ្រង់បញ្ញត្តហើយមិនមែនឬ នែអាវុសោ ហេតុអ្វី ក៏បានជាអ្នកឯងសេពមេថុនធម្មនឹងមេស្វានេះ ។ ភិក្ខុនោះ ឆ្លើយថា នែអាវុសោទាំងឡាយ សិក្ខាបទ ព្រះដ៏មានព្រះភាគទ្រង់បញ្ញត្តពិតមែនហើយ តែសិក្ខាបទនោះ ទ្រង់

បញ្ញត្តំ តញ្ច ខោ មនុស្សិត្ថិយា នោ តិរច្ឆានគតាយាតិ ។ ននុ អាវុសោ តថេវ តំ ហោតិ អននុច្ឆវិកំ អាវុសោ អននុលោមិកំ អប្បដិរូបំ អស្សាមណកំ អកប្បិយំ អករណីយំ កថំ ហិ នាម ត្វំ អាវុសោ ឯវំ ស្វាក្ខាតេ ធម្មវិនយេ បព្វជិត្វា ន សក្ខិស្សសិ យាវជីវំ បរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ ចរិតុំ ននុ អាវុសោ ភគវតា អនេក-បរិយាយេន វិរាគាយ ធម្មោ ទេសិតោ នោ សរាគាយ ។ បេ ។ កាមបរិឡាហានំ វូបសមោ អក្ខាតោ នេតំ អាវុសោ អប្បសន្នានំ វា បសាទាយ បសន្នានំ វា ភិយ្យោភាវាយ អថខ្វេតំ អាវុសោ អប្បសន្នានញ្ចេវ អប្បសាទាយ បសន្នានញ្ច ឯកច្ចានំ អញ្ញថត្តាយាតិ ។ អថខោ តេ ភិក្ខូ តំ ភិក្ខុំ អនេកបរិយាយេន វិគរហិត្វា ភគវតោ ឯតមត្ថំ អារោចេសុំ ។



បញ្ញត្តចំពោះតែស្រីមនុស្ស មិនមែនបញ្ញត្តចំពោះសត្វតិរច្ឆានញីទេ ។ ភិក្ខុទាំងឡាយនោះពោលថា នែអាវុសោ សិក្ខាបទដែលព្រះអង្គបញ្ញត្តចំពោះស្រីមនុស្ស ក៏ដូចសត្វតិរច្ឆានញីដែរ មិនមែនឬ នែអាវុសោ (អំពើអាក្រក់ដែលអ្នកធ្វើនោះ) ជាអំពើមិនសមគួរ មិនត្រូវទំនង មិនត្រូវបែប មិនមែនជារបស់សមណៈ មិនគប្បី មិនគួរធ្វើទេ នែអាវុសោ គួរបើដែរ អ្នកឯងបួសក្នុងធម្មវិន័យដែលព្រះដ៏មានព្រះភាគត្រាស់សំដែងល្អហើយ ហ៊ាននេះក្រឡាំង ពៅជាប្រព្រឹត្តព្រហ្មចរិយធម៌ឲ្យបរិសុទ្ធពេញផ្គប់អស់ជីវិតមិនកើត នែអាវុសោ ធម៌ដែលព្រះដ៏មានព្រះភាគទ្រង់សំដែងហើយ ដើម្បីឲ្យប្រាសចាករាគៈ មិនមែនដើម្បីប្រកបដោយរាគៈ ។ បេ ។ ការរម្ងាប់នូវសេចក្តីក្តៅក្រហាយអន្ទះអន្ទែងក្នុងកាមទាំងឡាយ ព្រះអង្គទ្រង់សំដែងហើយដោយអនេកបរិយាយ មិនមែនឬ ម្នាលអាវុសោ អំពើអាក្រក់ដែលអ្នកធ្វើនេះ មិនមែននាំឲ្យកើតសេចក្តីជ្រះថ្លាដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លាទេ មិនមែននាំជនទាំងឡាយដែលជ្រះថ្លាហើយឲ្យរឹតតែជ្រះថ្លាថែមទៀតទេ នែអាវុសោ អំពើអាក្រក់ដែលអ្នកនេះរមែងនាំឲ្យកើតសេចក្តីមិនជ្រះថ្លាដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លា នាំជនទាំងឡាយខ្លះដែលជ្រះថ្លាហើយឲ្យបាត់ជ្រះថ្លាទៅវិញ គ្រានោះ ភិក្ខុទាំងឡាយនោះ ក៏តិះដៀលភិក្ខុនោះ ដោយបរិយាយច្រើនហើយ នាំគ្នាក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ

(៦៦) អថ ខោ ភគវា ឯតស្មឹ និទានេ ឯតស្មឹ បករណេ ភិក្ខុសង្ឃំ សន្និបាតាបេត្វា តំ ភិក្ខុំ បដិបុច្ឆិ សច្ចំ កិរ ត្វំ ភិក្ខុ មក្កដិយា មេថុនំ ធម្មំ បដិសេវសីតិ ។ សច្ចំ ភគវាតិ ។ វិគរហិ ពុទ្ធោ ភគវា អននុច្ឆវិកំ មោឃបុរិស អននុលោមិកំ អប្បដិរូបំ អស្សាមណកំ អកប្បិយំ អករណីយំ កថំ ហិ នាម ត្វំ មោឃបុរិស ឯវំ ស្វាក្ខាតេ ធម្មវិនយេ បព្វជិត្វា ន សក្ខិស្សសិ យាវជីវំ បរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ ចរិតុំ ននុ មយា មោឃបុរិស អនេកបរិយាយេន វិរាគាយ ធម្មោ ទេសិតោ នោ សរាគាយ ។បេ។ កាមបរិឡាហានំ វូបសមោ អក្ខាតោ វរំ តេ មោឃបុរិស អាសីវិសស្ស ឃោរវិសស្ស មុខេ អង្គជាតំ បក្ខិត្តំ ន ត្វេវ មក្កដិយា អង្គជាតេ អង្គជាតំ បក្ខិត្តំ វរំ តេ មោឃបុរិស កណ្ហសប្បស្ស មុខេ អង្គជាតំ បក្ខិត្តំ ន ត្វេវ មក្កដិយា អង្គជាតេ អង្គជាតំ បក្ខិត្តំ វរំ តេ មោឃបុរិស អង្គារកាសុយា អាទិត្តាយ សម្បជ្ជលិតាយ សជោតិភូតាយ អង្គជាតំ បក្ខិត្តំ



(៦៦) ព្រោះនិទាននេះ ដំណើរនេះ ព្រះដ៏មានព្រះភាគទ្រង់ឲ្យប្រជុំភិក្ខុសង្ឃ ហើយត្រាស់សួរភិក្ខុនោះ ក្នុងវេលានោះថា ម្នាលភិក្ខុ ឮថា អ្នកឯងសេពមេថុនធម្មនឹងមេស្វាពិតមែនឬ ។ ភិក្ខុនោះក្រាបទូលថា សូមពាទពិតមែន ។ ព្រះពុទ្ធដ៏មានព្រះភាគទ្រង់តិះដៀលថា នែមោឃបុរស (អំពើអាក្រក់ដែលអ្នកឯងធ្វើនេះ) ជាអំពើមិនសមគួរ មិនត្រូវទំនង មិនក្រៀប មិនមែនជារបស់សមណៈ មិនគប្បី មិនគួរធ្វើទេ នែមោឃបុរស គួរបើនែ អ្នកឯងបួសក្នុងធម្មវិន័យដែលតថាគតសំដែងហើយដោយល្អយ៉ាងនេះ ត្រឡាំង ទៅជាប្រព្រឹត្តព្រហ្មចរិយធម៌ឲ្យបរិសុទ្ធពេញលេញដរាបដល់អស់ជីវិតមិនកើត នែមោឃបុរស ធម៌ដែលតថាគតសំដែងហើយ ដើម្បីប្រាសចាករាគៈ មិនមែនដើម្បីប្រកបដោយរាគៈទេ ។បេ។ កិរិយារម្ងាប់នូវសេចក្តីក្តៅក្រហាយព្រោះអន្ទះអន្ទែងក្នុងកាមទាំងឡាយ តថាគតសំដែងហើយដោយអនេកបរិយាយ នែមោឃបុរស អ្នកឯងដាក់អង្គជាតទៅក្នុងមាត់អាសិរពិស មានពិសដ៏ខ្លាំងក្លាប្រសើរជាង អ្នកឯងដាក់អង្គជាតទៅក្នុងអង្គជាតរបស់មេស្វាមិនប្រសើរសោះឡើយ ម្នាលមោឃបុរស អ្នកឯងដាក់អង្គជាតទៅក្នុងមាត់ពស់វែកប្រសើរជាង ដែលអ្នកឯងដាក់អង្គជាតទៅក្នុងអង្គជាតរបស់មេស្វានោះពុំប្រសើរសោះឡើយ ម្នាលមោឃបុរស ស៊ូរអ្នកឯងដាក់អង្គជាតទៅក្នុងរងើកភ្លើងក្តៅ ដែលកំពុងឆេះសន្ធោសន្ធៅ

ន ត្វេវ មក្កដិយា អង្គជាតេ អង្គជាតំ បក្ខិត្តំ តំ កិស្ស ហេតុ ឥតោនិទានំ ហិ មោឃបុរិស មរណំ វា និគច្ឆេយ្យ មរណមត្តំ វា ទុក្ខំ ន ត្វេវ តប្បច្ចយា កាយស្ស ភេទា បរំ មរណា អបាយំ ទុគ្គតឹ វិនិបាតំ និរយំ ឧបបជ្ជេយ្យ ឥតោនិទានញ្ច ខោ មោឃបុរិស កាយស្ស ភេទា បរំ មរណា អបាយំ ទុគ្គតឹ វិនិបាតំ និរយំ ឧបបជ្ជេយ្យ តត្ថ នាម ត្វំ មោឃបុរិស យំ ត្វំ អសទ្ធម្មំ គាមធម្មំ វសលធម្មំ ទុដ្ឋុល្លំ ឱទកន្តិកំ រហស្សំ ទ្វយំ ទ្វយសមាបត្តឹ សមាបជ្ជិស្សសិ នេតំ មោឃបុរិស អប្បសន្នានំ វា បសាទាយ ។ បេ ។ ឯវញ្ច បន ភិក្ខវេ ឥមំ សិក្ខាបទំ ឧទ្ទិសេយ្យាថ

៥ យោ បន ភិក្ខុ មេថុនំ ធម្មំ បដិសេវេយ្យ



មានអណ្តាតភ្លើងដ៏ក្តៅក្រៃលែងប្រសើរជាង ឯអង្គជាតដែលអ្នកឯងដាក់ទៅក្នុងអង្គជាតរបស់មេស្វានោះ ពុំប្រសើរឡើយ ពាក្យដែលតថាគតពោលនោះ ព្រោះហេតុអ្វី ម្នាលមោឃបុរស ព្រោះថាទោះបុគ្គលដល់នូវសេចក្តីស្លាប់ ឬសេចក្តីទុក្ខស្មើនឹងស្លាប់ ដោយហេតុដែលដាក់នូវអង្គជាតទៅក្នុងមាត់ពស់វែកជាដើមនោះក៏ដោយ បុគ្គលនោះលុះរំលាយខន្ធ មិនបានចូលទៅកាន់កំណើត ប្រេត អសុរកាយ នរក ព្រោះតែដាក់អង្គជាតទៅក្នុងមាត់ពស់វែកជាដើមនោះទេ ម្នាលមោឃបុរស (ឯភិក្ខុនោះ) លុះរំលាយខន្ធ ក៏តែងតែទៅកាន់កំណើត ប្រេត អសុរកាយ នរក ព្រោះហេតុដែលដាក់អង្គជាតទៅក្នុងអង្គជាតមេស្វានេះឯង ម្នាលមោឃបុរស កាលបើកម្មនោះមានទោសធ្ងន់ដល់ម្ល៉េះហើយ អ្នកឯងមិនគួរបើហានសេពអសទ្ធម្មជាធម៌របស់អ្នកស្រុក ជាធម៌របស់មនុស្សថោកទាប គ្រាស់ដោយអំពើអាក្រក់ មានកិច្ចដោយទឹកជាទីបំផុត របស់ជនមានគូស្រករ ជាធម៌លាក់លៀម ដែលគេត្រូវប្រព្រឹត្តតែពីរនាក់នោះសោះ ម្នាលមោឃបុរស អំពើដែលអ្នកឯងធ្វើនោះមិនប្រព្រឹត្តទៅ ដើម្បីសេចក្តីជ្រះថ្លាដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លាទេ ។ បេ ។ ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយគប្បីសំដែងសិក្ខាបទនេះយ៉ាងនេះថា ភិក្ខុណាមួយសេពមេថុនធម្ម

អន្តមសោ តិរច្ឆានគតាយបិ បារាជិកោ ហោតិ អសំវាសោតិ ។ ឯវញ្ចិទំ ភគវតា ភិក្ខូនំ សិក្ខាបទំ បញ្ញត្តំ ហោតិ ។

មក្កដីវត្ថុ(១) និដ្ឋិតំ ។

(៤៣) តេន ខោ បន សមយេន សម្ពហុលា វេសាលិកា វជ្ជិបុត្តកា ភិក្ខូ យាវទត្ថំ ភុញ្ជិំសុ យាវទត្ថំ សុបិំសុ យាវទត្ថំ នហាយិំសុ យាវទត្ថំ ភុញ្ជិត្វា យាវទត្ថំ សុបិត្វា យាវទត្ថំ នហាយិត្វា អយោនិសោ មនសិការិត្វា សិក្ខំ អប្បច្ចក្ខាយ ទុព្វល្យំ អនាវិកត្វា មេថុនំ ធម្មំ បដិសេវិំសុ ។ តេ អបរេន សមយេន ញាតិព្យសនេនបិ ផុដ្ឋា ភោគព្យសនេនបិ ផុដ្ឋា រោគព្យសនេនបិ ផុដ្ឋា អាយស្មន្តំ អានន្ទំ ឧបសង្កមិត្វា ឯវំ វទន្តិ ន មយំ ភន្តេ អានន្ទ ពុទ្ធគរហិនោ ន ធម្មគរហិនោ ន សង្ឃគរហិនោ អត្តគរហិនោ មយំ ភន្តេ អានន្ទ អនញ្ញគរហិនោ

១ ម. យុ. មក្កដីសិក្ខាបទំ និដ្ឋិតំ ។



ដោយហោចទៅ សូម្បីនឹងសត្វតិរច្ឆានញី ភិក្ខុនោះត្រូវអាបត្តិបារាជិក រកសំវាសគ្មាន ។ ព្រះដ៏មានព្រះភាគទ្រង់បញ្ញត្តសិក្ខាបទនេះ ចំពោះភិក្ខុទាំងឡាយដោយហេតុយ៉ាងនេះឯង ។

មក្កដីវត្ថុ ចប់ ។

(៤៣) ក្នុងសម័យនោះ ពួកភិក្ខុវជ្ជីបុត្រនៅក្នុងក្រុងវេសាលីជាច្រើនរូប ឆាន់ត្រាតែឆ្អែតហើយសិង ។ ស្កប់ហើយស្រង់ទឹក ។ ហើយឆាន់ ។ ហើយសិង ។ ស្កប់ស្កល់ហើយស្រង់ទឹក ឥតបានធ្វើទុកក្នុងចិត្តដោយឧបាយប្រាជ្ញាឡើយ មិនពោលលាសិក្ខា មិនធ្វើឲ្យច្បាស់នូវភាពជាអ្នកមានកំឡាំងថយ (គឺមិនសឹកសិន) ហើយសេពមេថុនធម្ម ។ លុះសម័យតមកខាងក្រោយ ភិក្ខុទាំងនោះ ប្រទះសេចក្ដីព្រាត់ព្រាសចាកញាតិខ្លះ ប្រទះសេចក្ដីវិនាសភោគសម្បត្តិខ្លះ ប្រទះរោគមកបៀតបៀនខ្លះ (ក៏នាំគ្នា) ចូលទៅរកព្រះអានន្ទដ៏មានអាយុ ហើយពោលពាក្យយ៉ាងនេះថា បពិត្រព្រះអានន្ទដ៏ចំរើន យើងខ្ញុំទាំងឡាយមិនមែនជាអ្នកតិះដៀលព្រះពុទ្ធ តិះដៀលព្រះធម៌ តិះដៀលព្រះសង្ឃទេ បពិត្រព្រះអានន្ទដ៏ចំរើន យើងខ្ញុំទាំងឡាយជាអ្នកតិះដៀលតែខ្លួនឯង មិនមែនតិះដៀលអ្នកដទៃទេ

មយមេត្ថ អលក្ខិកា មយំ អប្បបុញ្ញា យេ មយំ ឯវំ ស្វាក្ខាតេ ធម្មវិនយេ បព្វជិត្វា នាសក្ខិម្ហា យាវជីវំ បរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ ចរិតុំ[១] ឥទានិបិ ចេ មយំ ភន្តេ អានន្ទ លភេយ្យាម ភគវតោ សន្តិកេ បព្វជ្ជំ លភេយ្យាម ឧបសម្បទំ ឥទានិបិ មយំ វិបស្សកា កុសលានំ ធម្មានំ បុព្វរត្តាបរត្តំ ពោធិបក្ខិកានំ ធម្មានំ ភាវនានុយោគមនុយុត្តា វិហរេយ្យាម សាធុ ភន្តេ អានន្ទ ភគវតោ ឯតមត្ថំ អារោចេហីតិ ។ ឯវមាវុសោតិ ខោ អាយស្មា អានន្ទោ វេសាលិកានំ វជ្ជីបុត្តកានំ បដិស្សុណិត្វា យេន ភគវា តេនុបសង្កមិ ឧបសង្កមិត្វា ភគវតោ ឯតមត្ថំ អារោចេសិ ។ អដ្ឋានមេតំ អានន្ទ អនវកាសោ យំ តថាគតោ

១ ឱ. ម. ចរិតុំ បទំ ។



យើងខ្ញុំទាំងឡាយ បានមកបួសក្នុងធម្មវិន័យដែលព្រះដ៏មានព្រះភាគ ទ្រង់ត្រាស់សំដែងហើយដោយប្រពៃយ៉ាងនេះ ក៏នៅជាប្រព្រឹត្តព្រហ្មចរិយធម៌ឲ្យបរិសុទ្ធ ឲ្យបរិបូណ៌អស់មួយជីវិតមិនកើត យើងខ្ញុំទាំងឡាយ នៅតែជាមនុស្សឥតសំណាងសោះ យើងខ្ញុំតែងជាមនុស្សឥតបុណ្យ បពិត្រព្រះអានន្ទដ៏ចំរើន បើប្រសិនជាយើងខ្ញុំបានបួសបព្វជ្ជា បានឧបសម្បទា ក្នុងសំណាក់ព្រះដ៏មានព្រះភាគក្នុងកាលឥឡូវនេះទៀត នោះយើងខ្ញុំនឹងបានឃើញច្បាស់ក្នុងកុសលធម៌ទាំងឡាយ នឹងខំប្រឹងប្រែងបំពេញភាវនាជាគ្រឿងញុំាងធម៌ទាំងឡាយ ដែលជាចំណែកនៃពោធិញ្ញាណឲ្យចំរើនអស់កាលមុននិងកាលក្រោយ (គឺបឋមយាមនិងបច្ឆិមយាម) ក្នុងកាលឥឡូវនេះផង បពិត្រព្រះអានន្ទដ៏ចំរើន យើងខ្ញុំសូមអង្វរ សូមលោកម្ចាស់នាំសេចក្តីនេះទៅក្រាបទូលព្រះដ៏មានព្រះភាគឲ្យបានជ្រាប ។ ព្រះអានន្ទដ៏មានអាយុ ក៏ទទួលពាក្យរបស់ពួកភិក្ខុវជ្ជីបុត្តអ្នកក្រុងវេសាលីថា អើ ករុណា ហើយចូលទៅគាល់ព្រះដ៏មានព្រះភាគ លុះចូលទៅដល់ហើយក៏បានក្រាបទូលសេចក្តីនុ៎ះ ចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលអានន្ទ តថាគតគប្បីដកសិក្ខាបទឈ្មោះបារាជិក ដែលតថាគត

វជ្ជីនំ វា វជ្ជិបុត្តកានំ វា ការណា សាវកានំ បារាជិកំ សិក្ខាបទំ បញ្ញត្តំ សមូហនេយ្យាតិ ។

(៦៦) អថខោ ភគវា ឯតស្មឹ និទានេ ឯតស្មឹ បករណេ ធម្មឹ កថំ កត្វា ភិក្ខូ អាមន្តេសិ យោ ខោ(១) ភិក្ខវេ ភិក្ខុ សិក្ខំ អប្បច្ចក្ខាយ ទុព្វល្យំ អនាវិកត្វា មេថុនំ ធម្មំ បដិសេវតិ សោ អាគតោ ន ឧបសម្បាទេតព្វោ យោ ច ខោ ភិក្ខវេ ភិក្ខុ(២) សិក្ខំ បច្ចក្ខាយ ទុព្វល្យំ អាវិកត្វា មេថុនំ ធម្មំ បដិសេវតិ សោ អាគតោ ឧបសម្បាទេតព្វោ ឯវញ្ច បន ភិក្ខវេ ឥមំ សិក្ខាបទំ ឧទ្ទិសេយ្យាថ យោ បន ភិក្ខុ ភិក្ខូនំ សិក្ខាសាជីវសមាបន្នោ សិក្ខំ អប្បច្ចក្ខាយ ទុព្វល្យំ អនាវិកត្វា មេថុនំ ធម្មំ បដិសេវេយ្យ អន្តមសោ តិរច្ឆានគតាយបិ បារាជិកោ ហោតិ អសំវាសោតិ ។

១ ម. បន ។ ២ សព្វត្ថ ឃាយេ ទិស្សតិ ។



បានបញ្ញត្តហើយដល់សាវកទាំងឡាយ ព្រោះហេតុនៃជនអ្នកនៅក្នុងដែនវជ្ជីទាំងឡាយក្តី ព្រោះហេតុនៃវជ្ជីបុត្តកភិក្ខុទាំងឡាយក្តី ដោយអំពើណាអំពើនុះ មិនមែនជាហេតុ មិនមែនជាឱកាសឡើយ ។

(៦៦) ព្រោះនិទាននេះ ព្រោះដំណើរនេះ ទើបព្រះដ៏មានព្រះភាគជាម្ចាស់ទ្រង់សំដែងធម្មីកថា ហើយត្រាស់ហៅភិក្ខុទាំងឡាយមកហើយ មានព្រះពុទ្ធដីកាថា ម្នាលភិក្ខុទាំងឡាយ ភិក្ខុណាមួយ មិនបោលលាសិក្ខា មិនប្រកាសខ្លួនថាជាអ្នកមានកំឡាំងថយ ហើយសេពមេថុនធម្ម បើភិក្ខុនោះមក (សូមឧបសម្បទានឹងសង្ឃទៀត) សង្ឃមិនត្រូវឲ្យឧបសម្បទាឡើយ ម្នាលភិក្ខុទាំងឡាយ បើភិក្ខុណាមួយបោលលាសិក្ខាហើយ ប្រកាសខ្លួនថាជាអ្នកមានកំឡាំងថយ ហើយសេពមេថុនធម្ម បើភិក្ខុនោះ (សូមបួសទៀត) សង្ឃគប្បីឲ្យឧបសម្បទាចុះ ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយគប្បីសំដែងសិក្ខាបទនេះយ៉ាងនេះថា ភិក្ខុណាមួយដល់ព្រមដោយសិក្ខានិងសាជីវៈ (ដែលតថាគតបញ្ញត្តហើយ) សម្រាប់ភិក្ខុទាំងឡាយ ហើយមិនបោលលាសិក្ខា មិនធ្វើឲ្យជាក់ច្បាស់នូវភាវៈជាអ្នកមានកំឡាំងថយ ហើយសេពមេថុនធម្ម ដោយហោចទៅសូម្បីតែនឹងសត្វតិរច្ឆានញី ភិក្ខុនោះត្រូវអាបត្តិបារាជិក រកសំវាសគ្មាន ។

(៤៨) យោ បនាតិ យោ យាទិសោ យថាយុត្តោ យថាជច្ចោ យថានាមោ យថាគោត្តោ យថាសីលោ យថាវិហារី យថាគោចរោ ថេរោ វា នវោ វា មជ្ឈិមោ វា ឯសោ វុច្ចតិ យោ បនាតិ ។

(៤៩) ភិក្ខូតិ ភិក្ខកោតិ ភិក្ខុ ។ ភិក្ខាចរិយំ អជ្ឈុបគតោតិ ភិក្ខុ ។ ភិន្នបដធរោតិ ភិក្ខុ ។ សមញ្ញាយ ភិក្ខុ ។ បដិញ្ញាយ ភិក្ខុ ។ ឯហិភិក្ខូតិ ភិក្ខុ ។ តីហិ សរណគមនេហិ ឧបសម្បន្នោតិ ភិក្ខុ ។ ភទ្រោតិ(១) ភិក្ខុ ។ សារោតិ ភិក្ខុ ។ សេក្ខោតិ ភិក្ខុ ។ អសេក្ខោតិ ភិក្ខុ ។ សមគ្គេន សង្ឃេន ញត្តិចតុត្ថេន កម្មេន អកុប្បេន ឋានារហេន ឧបសម្បន្នោតិ ភិក្ខុ ។

---

១ [illegible]



(៤៨) ត្រង់ពាក្យថា ណាមួយ អធិប្បាយថា ភិក្ខុជាថេរៈក្តី ភិក្ខុបួសថ្មីក្តី ភិក្ខុកណ្តាលក្តីឯណា គឺថាតាមតែភិក្ខុរូបណា ដែលប្រកបនឹងកម្មយ៉ាងណា មានជាតិយ៉ាងណា មានឈ្មោះយ៉ាងណា មានគោត្រយ៉ាងណា មានប្រក្រតីយ៉ាងណា មានគ្រឿងនៅយ៉ាងណា មានគោចរយ៉ាងណាក៏ដោយ ភិក្ខុនេះតថាគតហៅថា (ភិក្ខុ) ណាមួយ ។

(៤៩) ត្រង់ពាក្យថា ភិក្ខុ មានសេចក្តីថា សមណៈណាជាអ្នកសូម សមណៈនោះហៅថា ភិក្ខុ ។ សមណៈណាចូលទៅកាន់ភិក្ខាចារវត្ត សមណៈនោះហៅថា ភិក្ខុ ។ ជនណាទ្រទ្រង់សំពត់ដែលគេកាត់ហើយ ជននោះហៅថា ភិក្ខុ ។ ជនដែលហៅថា ភិក្ខុ ព្រោះហេតុតែការបញ្ញត្តិថា សមណៈ ។ ហៅថា ភិក្ខុ ព្រោះបានប្តេជ្ញាខ្លួន ។ ហៅថា ភិក្ខុ ព្រោះសម្រេចថា ឯហិភិក្ខុ ។ ហៅថា ភិក្ខុ ព្រោះបានឧបសម្បទាដោយសរណគមន៍ ៣ ។ ហៅថា ភិក្ខុ ព្រោះហេតុជាអ្នកចំរើន ។ ហៅថា ភិក្ខុ ព្រោះមានសារធម៌ ។ ហៅថា ភិក្ខុ ព្រោះជាអ្នកសិក្សា ។ ហៅថា ភិក្ខុ ព្រោះមិនបាច់សិក្សា ។ ហៅថា ភិក្ខុ ព្រោះបានឧបសម្បទាដោយញត្តិចតុត្ថកម្មជាកម្មដ៏សមគួរដល់ហេតុដែលមិនគួរនឹងសេចក្តីអន្តរាយ ដោយសង្ឃដែលព្រមព្រៀងហើយ ។ បណ្តាភិក្ខុ

តត្រ យាយំ ភិក្ខុ សមគ្គេន សង្ឃេន ញត្តិចតុត្ថេន កម្មេន អកុប្បេន ឋានារហេន ឧបសម្បន្នោ អយំ ឥមស្មឹ អត្ថេ អធិប្បេតោ ភិក្ខូតិ ។

(៦៧) សិក្ខាតិ តិស្សោ សិក្ខា អធិសីលសិក្ខា អធិចិត្តសិក្ខា អធិបញ្ញាសិក្ខា តត្រ យាយំ អធិសីលសិក្ខា អយំ ឥមស្មឹ អត្ថេ អធិប្បេតា សិក្ខាតិ ។

(៦៨) សាជីវំ នាម យំ ភគវតា បញ្ញត្តំ សិក្ខាបទំ ឯតំ សាជីវំ នាម តស្មឹ សិក្ខតិ តេន វុច្ចតិ សាជីវសមាបន្នោតិ ។

(៦៩) សិក្ខំ អប្បច្ចក្ខាយ ទុព្ពល្យំ អនាវិកត្វាតិ អត្ថិ ភិក្ខវេ ទុព្ពល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច អប្បច្ចក្ខាតា ។ អត្ថិ ភិក្ខវេ



ទាំងនោះ ភិក្ខុណាដែលបានឧបសម្បទាដោយញត្តិចតុត្ថកម្មមិនកម្រើក ដ៏សម-គួរដល់ហេតុដែលមិនមានវិបត្តិកើត ដោយសង្ឃដែលព្រមព្រៀងហើយ ភិក្ខុនេះ តថាគតសំដៅយកក្នុងអត្ថនេះ ។

(៦៧) ត្រង់ពាក្យថា សិក្ខា សំដៅត្រង់សិក្ខា ៣ គឺ អធិសីល-សិក្ខា ១ អធិចិត្តសិក្ខា ១ អធិបញ្ញាសិក្ខា ១ បណ្តាសិក្ខាទាំង ៣ នោះ សិក្ខាណាដែលហៅថា អធិសីលសិក្ខា សិក្ខានេះតថាគតសំដៅយកក្នុងសេចក្តីនេះ ។

(៦៨) ត្រង់ពាក្យថា សាជីវៈ គឺសិក្ខាបទណា ដែលព្រះមានព្រះភាគទ្រង់បញ្ញត្តហើយ សិក្ខាបទដែលព្រះមានព្រះភាគបានបញ្ញត្តហើយនុ៎ះ ហៅថា សាជីវៈ ភិក្ខុដែលសិក្សាក្នុងសិក្ខាបទ ហៅថា សាជីវៈ នោះ តថាគតហៅថា អ្នកដល់ព្រមដោយ សាជីវៈ ដោយហេតុនោះឯង ។

(៦៩) ត្រង់ពាក្យថា មិនលាលាសិក្ខា មិនធ្វើឲ្យច្បាស់នូវភាវៈជាអ្នកមានកំឡាំងថយ (មានព្រះពុទ្ធភាសិតថា) ម្នាលភិក្ខុទាំងឡាយ កិរិ-យាដែលភិក្ខុគ្រាន់តែធ្វើឲ្យច្បាស់នូវភាវៈជាអ្នកមានកំឡាំងថយ ប៉ុន្តែសិក្ខា ហៅថា ភិក្ខុមិនទាន់លាលាទៅឡើយក៏មាន ។ ម្នាលភិក្ខុទាំងឡាយ

ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច បច្ចក្ខាតា ។

(៣០) កថញ្ច ភិក្ខវេ ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច អបច្ចក្ខាតា ។ ឥធ ភិក្ខវេ ភិក្ខុ ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដីយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ឧបាសកភាវំ បត្ថយមានោ អារាមិកភាវំ បត្ថយមានោ សាមណេរភាវំ បត្ថយមានោ តិត្ថិយភាវំ បត្ថយមានោ តិត្ថិយសាវកភាវំ បត្ថយមានោ អស្សមណភាវំ បត្ថយមានោ អសក្យបុត្តិយភាវំ បត្ថយមានោ យន្នូនាហំ ពុទ្ធំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ភិក្ខវេ ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច អបច្ចក្ខាតា ។ អថ វា បន ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដីយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ។បេ។ អសក្យបុត្តិយភាវំ បត្ថយមានោ



គឺយ៉ាងដែលភិក្ខុបានធ្វើឲ្យច្បាស់នូវភាពជាអ្នកមានកំឡាំងថយហើយ សិក្ខា ហៅថា ភិក្ខុបានពោលលាហើយក៏មាន ។

(៣០) ម្នាលភិក្ខុទាំងឡាយ គឺយ៉ាងដែលភិក្ខុគ្រាន់តែធ្វើឲ្យច្បាស់នូវភាពជាអ្នកមានកំឡាំងថយ ប៉ុន្តែសិក្ខា ហៅថា ភិក្ខុមិនទាន់បានពោលលានៅឡើយ នោះតើដូចម្តេច ។ ម្នាលភិក្ខុទាំងឡាយ ភិក្ខុក្នុងសាសនានេះ អផ្សុកមិនរីករាយ ចង់ឲ្យឃ្លាតផុតចាកភេទជាសមណៈ នឿយណាយ ធុញទ្រាន់ ខ្ពើមរអើមនឹងភាពខ្លួនជាភិក្ខុ ប្រាថ្នាភាពជាគ្រហស្ថ ប្រាថ្នាភាពជាឧបាសក ប្រាថ្នាភាពជាអ្នកវត្តអារាម ប្រាថ្នាភាពជាសាមណេរ ប្រាថ្នាភាពជាតិរ្ថិយ ប្រាថ្នាភាពជាតិរ្ថិយសាវក ប្រាថ្នាភាពនៃខ្លួនមិនមែនជាសមណៈ ប្រាថ្នាភាពនៃខ្លួនមិនមែនជាសក្យបុត្រ ក៏និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់ព្រះពុទ្ធ ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះឯងហៅថា គឺយ៉ាងដែលភិក្ខុគ្រាន់តែធ្វើឲ្យច្បាស់នូវភាពជាអ្នកមានកំឡាំងថយ ប៉ុន្តែសិក្ខាហៅថា ភិក្ខុមិនទាន់បានពោលលានៅឡើយ ។ មួយវិញទៀត ភិក្ខុអផ្សុកមិនរីករាយ ចង់ចេញចាកសមណភាព នឿយណាយ ធុញទ្រាន់ ខ្ពើមរអើមនឹងភាពខ្លួនជាភិក្ខុ ប្រាថ្នាភាពជាគ្រហស្ថ ។បេ។ ប្រាថ្នានូវភាពមិនមែនជាសក្យបុត្រ ក៏និយាយឲ្យ

យន្នូនាហំ ធម្មំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ បេ ។
យន្នូនាហំ សង្ឃំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។
យន្នូនាហំ សិក្ខំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។
យន្នូនាហំ វិនយំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។
យន្នូនាហំ បាតិមោក្ខំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។
យន្នូនាហំ ឧទ្ទេសំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។
យន្នូនាហំ ឧបជ្ឈាយំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។
យន្នូនាហំ អាចរិយំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។
យន្នូនាហំ សទ្ធិវិហារិកំ[១] បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ អន្តេវាសិកំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ សមានុបជ្ឈាយកំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ សមានាចរិយកំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ សព្រហ្មចារឹ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ គិហី អស្សន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ

១ ឧទ្ធ សទ្ធិវិហារិកន្តិ បទន្តិ ៥ ពំ សព្វត្ថ លេខតិ ។



អ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់ព្រះធម៌ ។ បេ ។
និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់ព្រះសង្ឃ ។
និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់សិក្ខា ។
និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់វិន័យ ។
និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់បាតិមោក្ខ ។
និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់ឧទ្ទេស ។
និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់ឧបជ្ឈាយ៍ ។
និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់អាចារ្យ ។
និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់សទ្ធិវិហារិក ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់អន្តេវាសិក ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់ភិក្ខុដែលមានឧបជ្ឈាយ៍ស្មើគ្នា ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់ភិក្ខុដែលមានអាចារ្យស្មើគ្នា ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវលះបង់ភិក្ខុអ្នកប្រព្រឹត្តធម៌ដ៏ប្រសើរស្មើគ្នា ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវទៅជាគ្រហស្ថ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែ

ឧបាសកោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ អារាមិកោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ សាមណេរោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ តិត្ថិយោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ តិត្ថិយសាវកោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ អស្សមណោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ យន្នូនាហំ អសក្យបុត្តិយោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ភិក្ខវេ ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច អប្បច្ចក្ខាតា ។ អថវា បន ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដីយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ។ បេ ។ អសក្យបុត្តិយភាវំ បត្ថយមានោ យទិ បនាហំ ពុទ្ធំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ បេ ។ យទិ បនាហំ អសក្យបុត្តិយោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ បេ ។ អបាហំ[១] ពុទ្ធំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ បេ ។ អបាហំ

១ ឱ, ម, អបាហំ ។



ខ្ញុំត្រូវទៅជាឧបាសក ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវទៅជាអ្នកវត្ត ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវទៅជាសាមណេរ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវទៅជាតិត្ថិយ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំត្រូវទៅជាតិត្ថិយសាវក ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំលែងធ្វើជាសមណៈ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើដូច្នោះ មានតែខ្ញុំលែងធ្វើជាសក្យបុត្រ ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះឯងហៅថា កិរិយាដែលភិក្ខុគ្រាន់តែធ្វើឲ្យច្បាស់នូវភាវៈជាអ្នកមានចិត្តទន់ថយ ប៉ុន្តែសិក្ខាមិនទាន់ហៅថាភិក្ខុបានពោលលានៅឡើយ ។ មួយវិញទៀត ភិក្ខុអផ្សុកមិនត្រេកអរ ចង់ឃ្លាតចាកសមណភាព កាលជាទុក្ខធុញទ្រាន់ខ្ពើមរអើមភាពជាភិក្ខុ ប្រាថ្នាភាពជាគ្រហស្ថ ។ បេ ។ ប្រាថ្នាភាពមិនមែនជាសក្យបុត្រ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើមែន មានតែខ្ញុំត្រូវលះបង់ព្រះពុទ្ធ ។ បេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បើមែន មានតែខ្ញុំត្រូវលែងធ្វើជាសក្យបុត្រ ។ បេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា កាលបើហេតុយ៉ាងនេះមានពិតមែន ខ្ញុំត្រូវលះបង់ព្រះពុទ្ធ ។ បេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា កាលបើយ៉ាងនេះ មានតែខ្ញុំត្រូវលែងធ្វើ

អសក្យបុត្តិយោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ បេ ។ ហន្ទាហំ ពុទ្ធំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ បេ ។ ហន្ទាហំ អសក្យបុត្តិយោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ បេ ។ ហោតុ មេ ពុទ្ធំ បច្ចក្ខេយ្យន្តិ វទតិ វិញ្ញាបេតិ ។ បេ ។ ហោតុ មេ អសក្យបុត្តិយោ អស្សន្តិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ភិក្ខវេ ទុព្ពល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច អបច្ចក្ខាតា ។ អថ បន ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដិយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ។ បេ ។ អសក្យបុត្តិយភាវំ បត្ថយមានោ មាតរំ សរាមីតិ វទតិ វិញ្ញាបេតិ ។ បិតរំ សរាមីតិ វទតិ វិញ្ញាបេតិ ។ ភាតរំ សរាមីតិ វទតិ វិញ្ញាបេតិ ។ ភគិនឹ សរាមីតិ វទតិ វិញ្ញាបេតិ ។ បុត្តំ សរាមីតិ វទតិ វិញ្ញាបេតិ ។ ធីតរំ សរាមីតិ វទតិ វិញ្ញាបេតិ ។ បជាបតឹ សរាមីតិ វទតិ វិញ្ញាបេតិ ។ ញាតកេ សរាមីតិ វទតិ វិញ្ញាបេតិ ។



ជាសក្យបុត្រ ។ បេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ណ្ហើយចុះ ខ្ញុំត្រូវតែលះបង់ព្រះពុទ្ធ ។ បេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ណ្ហើយចុះ ខ្ញុំត្រូវតែលែងធ្វើជាសក្យបុត្រ ។ បេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ហេតុរបស់ខ្ញុំលើកទុកសិនចុះ ខ្ញុំត្រូវលះបង់ព្រះពុទ្ធ ។ បេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ហេតុរបស់ខ្ញុំលើកទុកសិនចុះ ត្រូវតែខ្ញុំលែងធ្វើជាសក្យបុត្រ ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះហៅថា កិរិយាត្រឹមតែធ្វើឲ្យច្បាស់នូវភាវៈជាអ្នកមានកំឡាំងថយ ប៉ុន្តែសិក្ខាមិនទាន់ហៅថាភិក្ខុបានពោលលាហើយ ។ ឬមួយវិញទៀត ភិក្ខុអផ្សុក មិនត្រេកអរ ប្រាថ្នាដើម្បីឲ្យឃ្លាតចុះចាកសមណភាព ជាទុក្ខ ធុញទ្រាន់ ខ្ពើមរអើមភាពជាភិក្ខុ ប្រាថ្នាភាពជាគ្រហស្ថ ។ បេ ។ នឹកចង់ឲ្យខ្លួនទៅជាអសក្យបុត្រ ក៏និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកមាតា ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកបិតា ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកបងប្អូនប្រុស ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកបងប្អូនស្រី ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកកូនប្រុស ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកកូនស្រី ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកប្រពន្ធ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកញាតិ ។

មិត្តេ សរាមីតិ វទតិ វិញ្ញាបេតិ ។ គាមំ សរាមីតិ វទតិ វិញ្ញាបេតិ ។ និគមំ សរាមីតិ វទតិ វិញ្ញាបេតិ ។ ខេត្តំ សរាមីតិ វទតិ វិញ្ញាបេតិ ។ វត្ថុំ សរាមីតិ វទតិ វិញ្ញាបេតិ ។ ហិរញ្ញំ សរាមីតិ វទតិ វិញ្ញាបេតិ ។ សុវណ្ណំ សរាមីតិ វទតិ វិញ្ញាបេតិ ។ សិប្បំ សរាមីតិ វទតិ វិញ្ញាបេតិ ។ បុព្វេ ហសិតំ លបិតំ កីឡិតំ សមនុស្សរាមីតិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ភិក្ខវេ ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច អប្បច្ចក្ខាតា ។ អថវា បន ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដីយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ។ បេ ។ អសក្យបុត្តិយភាវំ បត្ថយមានោ មាតា មេ អត្ថិ សា មយា បោសេតព្វាតិ វទតិ វិញ្ញាបេតិ ។ បិតា មេ អត្ថិ សោ មយា បោសេតព្វោតិ វទតិ វិញ្ញាបេតិ ។ ភាតា មេ អត្ថិ សោ មយា បោសេតព្វោតិ វទតិ វិញ្ញាបេតិ ។ ភគិនី មេ អត្ថិ



និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកពួកមិត្ត ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកស្រុក ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកនិគម ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកស្រែ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកចំការ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកប្រាក់ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកមាស ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកសិល្បសាស្ត្រ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំរឭកដល់ញឹកញយនូវការសើច ការស្រដី និងការលេង ក្នុងកាលមុន ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះហៅថា កិរិយាគ្រាន់តែធ្វើឲ្យច្បាស់នូវភាវៈជាអ្នកមានកំឡាំងថយ ប៉ុន្តែសិក្ខាមិនទាន់ហៅថាភិក្ខុបានពោលលាឡើយ ។ មួយវិញទៀត ភិក្ខុអផ្សុក មិនរីករាយ ប្រាថ្នាឲ្យឃ្លាតចាកសមណភាព ជាទុក្ខ ធុញទ្រាន់ ខ្ពើមរអើមភាពជាភិក្ខុ ពេញចិត្តនឹងភាពគ្រហស្ថ ។ បេ ។ ពេញចិត្តនឹងភាពមិនមែនជាសក្យបុត្រ ក៏និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំមានមាតា ។ នោះខ្ញុំត្រូវតែចិញ្ចឹម ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បិតារបស់ខ្ញុំមាន បិតានោះខ្ញុំត្រូវតែចិញ្ចឹម ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បងប្អូនប្រុសរបស់ខ្ញុំមាន បងប្អូនប្រុសនោះខ្ញុំត្រូវតែចិញ្ចឹម ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បងប្អូន

សា មយា បោសេតព្វាតិ វទតិ វិញ្ញាបេតិ ។ បុត្តោ មេ អត្ថិ សោ មយា បោសេតព្វោតិ វទតិ វិញ្ញាបេតិ ។ ធីតា មេ អត្ថិ សា មយា បោសេតព្វាតិ វទតិ វិញ្ញាបេតិ ។ បជាបតី មេ អត្ថិ សា មយា បោសេតព្វាតិ វទតិ វិញ្ញាបេតិ ។ ញាតកា មេ អត្ថិ តេ មយា បោសេតព្វាតិ វទតិ វិញ្ញាបេតិ ។ មិត្តា មេ អត្ថិ តេ មយា បោសេតព្វាតិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ភិក្ខវេ ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច អប្បច្ចក្ខាតា ។ អថ វា បន ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដិយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ។ បេ ។ អសក្យបុត្តិយភាវំ បត្ថយមានោ មាតា មេ អត្ថិ សា មំ បោសេស្សតីតិ វទតិ វិញ្ញាបេតិ ។ បិតា មេ អត្ថិ សោ មំ បោសេស្សតីតិ វទតិ វិញ្ញាបេតិ ។ ភាតា មេ អត្ថិ សោ មំ បោសេស្សតីតិ វទតិ វិញ្ញាបេតិ ។ ភគិនី មេ អត្ថិ សា មំ បោសេស្សតីតិ វទតិ វិញ្ញាបេតិ ។



ស្រីរបស់ខ្ញុំមាន បងប្អូនស្រីនោះខ្ញុំត្រូវតែចិញ្ចឹម ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា កូនប្រុសរបស់ខ្ញុំមាន កូនប្រុសនោះខ្ញុំត្រូវតែចិញ្ចឹម ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា កូនស្រីរបស់ខ្ញុំមាន កូនស្រីនោះខ្ញុំត្រូវតែចិញ្ចឹម ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ប្រពន្ធរបស់ខ្ញុំមាន ប្រពន្ធនោះខ្ញុំត្រូវតែចិញ្ចឹម ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ពួកញាតិរបស់ខ្ញុំមាន ពួកញាតិនោះត្រូវតែខ្ញុំចិញ្ចឹម ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ពួកមិត្តរបស់ខ្ញុំមាន ពួកមិត្តនោះខ្ញុំត្រូវតែចិញ្ចឹម ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះហៅថា កិរិយាគ្រាន់តែធ្វើឲ្យច្បាស់នូវភាពជាអ្នកមានកំឡាំងថយ ផង សិក្ខាមិនទាន់ហៅថាភិក្ខុបានលាលែងឡើយ ។ ម្យ៉ាងទៀត ភិក្ខុអផ្សុក មិនត្រេកអរ ចង់ឃ្លាតចេញចាកសមណភាព ជាទុក្ខ ធុញទ្រាន់ ខ្ពើមរអើមភាពជាភិក្ខុ ប្រាថ្នាភាពគ្រហស្ថ ។ បេ ។ មិនប្រាថ្នាភាពជាសក្យបុត្រ ក៏និយាយឲ្យអ្នកដទៃដឹងច្បាស់ថា មាតារបស់ខ្ញុំមាន មាតានោះនឹងចិញ្ចឹមខ្ញុំ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បិតារបស់ខ្ញុំមាន បិតានោះនឹងចិញ្ចឹមខ្ញុំ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បងប្អូនប្រុសរបស់ខ្ញុំមាន បងប្អូនប្រុសនោះនឹងចិញ្ចឹមខ្ញុំ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា បងប្អូនស្រីរបស់ខ្ញុំមាន បងប្អូនស្រីនោះនឹងចិញ្ចឹមខ្ញុំ ។

បុត្តោ មេ អត្ថិ សោ មំ បោសេស្សតីតិ វទតិ វិញ្ញាបេតិ ។ ធីតា មេ អត្ថិ សា មំ បោសេស្សតីតិ វទតិ វិញ្ញាបេតិ ។ បជាបតី មេ អត្ថិ សា មំ បោសេស្សតីតិ វទតិ វិញ្ញាបេតិ ។ ញាតកា មេ អត្ថិ តេ មំ បោសេស្សន្តីតិ វទតិ វិញ្ញាបេតិ ។ មិត្តា មេ អត្ថិ តេ មំ បោសេស្សន្តីតិ វទតិ វិញ្ញាបេតិ ។ គាមោ មេ អត្ថិ តេនាហំ[1] ជីវិស្សាមីតិ វទតិ វិញ្ញាបេតិ ។ និគមោ មេ អត្ថិ តេនាហំ ជីវិស្សាមីតិ វទតិ វិញ្ញាបេតិ ។ ខេត្តំ មេ អត្ថិ តេនាហំ ជីវិស្សាមីតិ វទតិ វិញ្ញាបេតិ ។ វត្ថុ មេ អត្ថិ តេនាហំ ជីវិស្សាមីតិ វទតិ វិញ្ញាបេតិ ។ ហិរញ្ញំ មេ អត្ថិ តេនាហំ ជីវិស្សាមីតិ វទតិ វិញ្ញាបេតិ ។ សុវណ្ណំ មេ អត្ថិ តេនាហំ ជីវិស្សាមីតិ វទតិ វិញ្ញាបេតិ ។ សិប្បំ មេ អត្ថិ តេនាហំ ជីវិស្សាមីតិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ភិក្ខវេ ទុព្ពល្យាវិកម្មញ្ចេវ ហោតិ

១ ឱស ភាហន្តិចិ ណោហ ។



និយាយឲ្យអ្នកដទៃដឹងច្បាស់ថា កូនប្រុសរបស់ខ្ញុំមាន កូនប្រុសនោះនឹងចិញ្ចឹមខ្ញុំ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា កូនស្រីរបស់ខ្ញុំមាន កូនស្រីនោះនឹងចិញ្ចឹមខ្ញុំ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ប្រពន្ធរបស់ខ្ញុំមាន ប្រពន្ធនោះនឹងចិញ្ចឹមខ្ញុំ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ពួកញាតិរបស់ខ្ញុំមាន ញាតិទាំងនោះនឹងចិញ្ចឹមខ្ញុំ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ពួកមិត្តរបស់ខ្ញុំមាន មិត្តទាំងនោះនឹងចិញ្ចឹមខ្ញុំ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ស្រុករបស់ខ្ញុំមាន ខ្ញុំនឹងចិញ្ចឹមជីវិតដោយស្រុកនោះក៏បាន ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា និគមរបស់ខ្ញុំមាន ខ្ញុំនឹងចិញ្ចឹមជីវិតដោយនិគមនោះក៏បាន ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ស្រែរបស់ខ្ញុំមាន ខ្ញុំនឹងចិញ្ចឹមជីវិតដោយស្រែនោះក៏បាន ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ចំការរបស់ខ្ញុំមាន ខ្ញុំនឹងចិញ្ចឹមជីវិតដោយចំការនោះក៏បាន ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ប្រាក់របស់ខ្ញុំមាន ខ្ញុំនឹងចិញ្ចឹមជីវិតដោយប្រាក់នោះក៏បាន ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា មាសរបស់ខ្ញុំមាន ខ្ញុំនឹងចិញ្ចឹមជីវិតដោយមាសនោះក៏បាន ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា សិល្បសាស្ត្ររបស់ខ្ញុំមាន ខ្ញុំនឹងចិញ្ចឹមជីវិតដោយសិល្បសាស្ត្រនោះក៏បាន ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះហៅថា គឺគ្រាន់តែធ្វើឲ្យច្បាស់នូវភាវៈជាអ្នកមានកំឡាំងថយ

សិក្ខា ច អប្បច្ចក្ខាតា ។ អថ បន ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដីយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ។បេ។ អសក្យបុត្តិយភាវំ បត្ថយមានោ ទុក្ករន្តិ វទតិ វិញ្ញាបេតិ ។ ន សុករន្តិ វទតិ វិញ្ញាបេតិ ។ ទុច្ចរន្តិ វទតិ វិញ្ញាបេតិ ។ ន សុចរន្តិ វទតិ វិញ្ញាបេតិ ។ ន ឧស្សហាមីតិ វទតិ វិញ្ញាបេតិ ។ ន វិសហាមីតិ វទតិ វិញ្ញាបេតិ ។ ន រមាមីតិ វទតិ វិញ្ញាបេតិ ។ នាភិរមាមីតិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ខោ ភិក្ខវេ ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច អប្បច្ចក្ខាតា ។

(៣១) កថញ្ច ភិក្ខវេ ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច បច្ចក្ខាតា ។



ប៉ុន្តែសិក្ខាមិនទាន់ហៅថា ភិក្ខុបានពោលលាឡើយ ។ ន័យមួយទៀត ភិក្ខុអផ្សុក មិនរីករាយ ចង់ចេញចាកភាពជាសមណៈ ជាទុក្ខនឹងភាពជាភិក្ខុ ធុញឆ្អន់ ខ្ពើមរអើមភិក្ខុភាព ប្រាថ្នាភាពជាគ្រហស្ថ ។បេ។ ប្រាថ្នាភាពមិនមែនជាសក្យបុត្រ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា (អំពើនេះ) កម្របុគ្គលនឹងធ្វើបាន ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា (អំពើនេះ) បុគ្គលមិនមែនងាយនឹងធ្វើបានទេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា (អំពើនេះ) បុគ្គលប្រព្រឹត្តបានដោយកម្រ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា (អំពើនេះ) បុគ្គលមិនមែនប្រព្រឹត្តបានដោយងាយទេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំមិនអាច (នៅគ្រងភេទបព្វជិតបាន) ទេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំមិនហ៊ាន (នៅគ្រងភេទបព្វជិត) ទេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំមិនត្រេកអរ (នឹងភេទបព្វជិត) ទេ ។ និយាយឲ្យអ្នកដទៃដឹងច្បាស់ថា ខ្ញុំមិនពេញចិត្ត (នឹងភេទបព្វជិត) ទេ ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះហៅថា កិរិយាគ្រាន់តែធ្វើឲ្យច្បាស់នូវភាពជាអ្នកមានកំឡាំងថយ ប៉ុន្តែសិក្ខាមិនទាន់ហៅថាភិក្ខុបានពោលលាឡើយ ។

(៣១) ម្នាលភិក្ខុទាំងឡាយ កិរិយាដែលភិក្ខុធ្វើឲ្យជាក់ច្បាស់នូវភាពនៃខ្លួនជាបុគ្គលមានកំឡាំងថយ ទាំងសិក្ខាក៏ហៅថាភិក្ខុបានពោលលា

ឥធ ភិក្ខវេ ភិក្ខុ ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដីយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ។បេ។ អសក្យបុត្តិយភាវំ បត្ថយមានោ ពុទ្ធំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ ឯវម្បិ ភិក្ខវេ ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច បច្ចក្ខាតា ។ អថវា បន ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដីយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ។បេ។ អសក្យបុត្តិយភាវំ បត្ថយមានោ ធម្មំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ សង្ឃំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ សិក្ខំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ វិនយំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ បាតិមោក្ខំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ ឧទ្ទេសំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ ឧបជ្ឈាយំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ អាចរិយំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ សទ្ធិវិហារិកំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។



ដោយហេតុដូចម្តេច ។ ម្នាលភិក្ខុទាំងឡាយ ភិក្ខុក្នុងសាសនានេះ អផ្សុកមិនត្រេកអរ ចង់ឃ្លាតចាកភាពជាសមណៈ នឿយណាយ ធុញទ្រាន់ ខ្ពើមរអើមនឹងភាពជាភិក្ខុ ប្រាថ្នានូវភាពជាគ្រហស្ថ ។បេ។ ពេញចិត្តនឹងភាពមិនមែនជាសក្យបុត្រ ក៏និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់ព្រះពុទ្ធ ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះ ទើបហៅថា កិរិយាធ្វើឲ្យជាក់ច្បាស់នូវភាពនៃខ្លួនជាបុគ្គលមានកំឡាំងថយ ទាំងសិក្ខាក៏ហៅថាភិក្ខុបានលាលះ ។ មួយវិញទៀត ភិក្ខុអផ្សុក មិនត្រេកអរ ប្រាថ្នាចង់ឃ្លាតចាកភាពជាសមណៈ នឿយណាយ ធុញទ្រាន់ ខ្ពើមរអើមនឹងភាពជាភិក្ខុ ពេញចិត្តនឹងភាពជាគ្រហស្ថ ។បេ។ ពេញចិត្តនឹងភាពមិនមែនជាសក្យបុត្រ ក៏និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់ព្រះធម៌ ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់ព្រះសង្ឃ ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់សិក្ខា ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់វិន័យ ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់បាតិមោក្ខ ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់ឧទ្ទេស ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់ឧបជ្ឈាយ៍ ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់អាចារ្យ ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់សទ្ធិវិហារិក ។

អន្តេវាសិកំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ សមានុបជ្ឈាយកំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ សមានាចរិយកំ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ សព្រហ្មចារឹ បច្ចក្ខាមីតិ វទតិ វិញ្ញាបេតិ ។ បេ ។ គិហីតិ មំ ធារេហីតិ វទតិ វិញ្ញាបេតិ ។ ឧបាសកោតិ មំ ធារេហីតិ វទតិ វិញ្ញាបេតិ ។ អារាមិកោតិ មំ ធារេហីតិ វទតិ វិញ្ញាបេតិ ។ សាមណេរោតិ មំ ធារេហីតិ វទតិ វិញ្ញាបេតិ ។ តិត្ថិយោតិ មំ ធារេហីតិ វទតិ វិញ្ញាបេតិ ។ តិត្ថិយសាវកោតិ មំ ធារេហីតិ វទតិ វិញ្ញាបេតិ ។ អស្សមណោតិ មំ ធារេហីតិ វទតិ វិញ្ញាបេតិ ។ អសក្យបុត្តិយោតិ មំ ធារេហីតិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ភិក្ខវេ ទុព្វល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច បច្ចក្ខាតា ។ អថភ បខ ឧក្កណ្ឋិតោ អនភិរតោ សាមញ្ញា ចវិតុកាមោ ភិក្ខុភាវំ អដ្ដីយមានោ ហរាយមានោ ជិគុច្ឆមានោ គិហិភាវំ បត្ថយមានោ ។ បេ ។ អសក្យបុត្តិយភាវំ បត្ថយមានោ



និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់អន្តេវាសិក ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់បព្វជិត ដែលមានឧបជ្ឈាយ៍ស្មើគ្នា ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់បព្វជិតដែលមានអាចារ្យស្មើគ្នា ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំសូមលះបង់ភិក្ខុដែលប្រព្រឹត្តព្រហ្មចរិយៈជាមួយគ្នា ។ បេ ។ និយាយឲ្យគេដឹងច្បាស់ថា លោកចូរចាំទុកនូវខ្ញុំថាជាគ្រហស្ថចុះ ។ និយាយឲ្យគេដឹងច្បាស់ថា លោកចូរចាំទុកនូវខ្ញុំថាជាឧបាសកចុះ ។ និយាយឲ្យគេដឹងច្បាស់ថា លោកចូរចាំទុកនូវខ្ញុំថាជាអារាមិកចុះ ។ និយាយឲ្យគេដឹងច្បាស់ថា លោកចូរចាំទុកនូវខ្ញុំថាជាសាមណេរចុះ ។ និយាយឲ្យគេដឹងច្បាស់ថា លោកចូរចាំទុកនូវខ្ញុំថាជាតិរ្ថិយចុះ ។ និយាយឲ្យគេដឹងច្បាស់ថា លោកចូរចាំទុកនូវខ្ញុំថាជាសាវកនៃតិរ្ថិយចុះ ។ និយាយឲ្យគេដឹងច្បាស់ថា លោកចូរចាំទុកនូវខ្ញុំថា មិនមែនជាសមណៈទេចុះ ។ និយាយឲ្យគេដឹងច្បាស់ថា លោកចូរចាំទុកនូវខ្ញុំថា មិនមែនជាសក្យបុត្រទេ ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះឯងហៅថា ការធ្វើឲ្យជាក់ច្បាស់នូវការនៃខ្លួនជាបុគ្គលមានកំឡាំងថយ ទាំងសិក្ខាក៏ហៅថា ភិក្ខុបានលាលាហើយ ។ ម្យ៉ាងទៀត ភិក្ខុអផ្សុក មិនត្រេកអរ ចង់ឃ្លាតចាកភាពជាសមណៈ នឿយណាយ ជិនឆ្អន់ ខ្ពើមរអើមនឹងភាពជាភិក្ខុ ពេញចិត្តនឹងភាពជាគ្រហស្ថ ។ បេ ។ ពេញចិត្តនឹងភាពមិនមែនជាសក្យបុត្រ

អលំ មេ ពុទ្ធេនាតិ វទតិ វិញ្ញាបេតិ ។ បេ ។ អលំ មេ សព្រហ្មចារីហីតិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ភិក្ខវេ ។ បេ ។ អថវា បន ។ បេ ។ កិន្នុ មេ ពុទ្ធេនាតិ វទតិ វិញ្ញាបេតិ ។ បេ ។ កិន្នុ មេ សព្រហ្មចារីហីតិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ។ បេ ។ អថវា បន ។ បេ ។ ន មមត្ថោ ពុទ្ធេនាតិ វទតិ វិញ្ញាបេតិ ។ បេ ។ ន មមត្ថោ សព្រហ្មចារីហីតិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ។ បេ ។ អថវា បន ។ បេ ។ សុមុត្តាហំ ពុទ្ធេនាតិ វទតិ វិញ្ញាបេតិ ។ បេ ។ សុមុត្តាហំ សព្រហ្មចារីហីតិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ភិក្ខវេ ទុព្ពល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច បច្ចក្ខាតា ។ យានិ វា បនញ្ញានិបិ អត្ថិ ពុទ្ធវេវចនានិ វា ធម្មវេវចនានិ វា សង្ឃវេវចនានិ វា សិក្ខាវេវចនានិ វា



និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំមិនត្រូវការដោយព្រះពុទ្ធទេ ។ បេ ។ ពោលឲ្យគេដឹងច្បាស់ថា ខ្ញុំមិនត្រូវការដោយបព្វជិតមានព្រហ្មចរិយស្មើគ្នាទាំងឡាយទេ ។ ម្នាលភិក្ខុទាំងឡាយ គឺយ៉ាងនេះ ។ បេ ។ មួយវិញទៀត ។ បេ ។ និយាយឲ្យគេដឹងច្បាស់ថា ប្រយោជន៍អ្វីដោយព្រះពុទ្ធដល់ខ្ញុំ ។ បេ ។ និយាយឲ្យគេដឹងច្បាស់ថា ប្រយោជន៍អ្វីដោយសព្រហ្មចារីភិក្ខុទាំងឡាយដល់ខ្ញុំ ។ គឺយ៉ាងនេះ ។ បេ ។ មួយវិញទៀត ។ បេ ។ និយាយឲ្យគេដឹងច្បាស់ថា សេចក្តីត្រូវការដោយព្រះពុទ្ធនៃខ្ញុំមិនមាន ។ បេ ។ និយាយឲ្យគេដឹងច្បាស់ថា សេចក្តីត្រូវការដោយសព្រហ្មចារីភិក្ខុទាំងឡាយនៃខ្ញុំមិនមាន ។ គឺយ៉ាងនេះ ។ បេ ។ មួយវិញទៀត ។ បេ ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំរួចស្រឡះចាកព្រះពុទ្ធហើយ ។ បេ ។ និយាយឲ្យគេដឹងច្បាស់ថា ខ្ញុំរួចស្រឡះចាកសព្រហ្មចារីភិក្ខុទាំងឡាយហើយ ។ ម្នាលភិក្ខុទាំងឡាយ គឺយ៉ាងនេះ ហៅថា ការបានធ្វើឲ្យជាក់ច្បាស់នូវភាពនៃខ្លួនជាបុគ្គលមានកំឡាំងថយ ទាំងសិក្ខាក៏ហៅថា ភិក្ខុបានពោលលាហើយ ។ មួយវិញទៀត ពាក្យទាំងឡាយណា សូម្បីដទៃជាពាក្យផ្លាស់ប្តូរដោយពាក្យថាព្រះពុទ្ធក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថាព្រះធម៌ក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថាព្រះសង្ឃក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា

វិនយវេវចនំ វា បាតិមោក្ខវេវចនំ វា ឧទ្ទេសវេវចនំ វា ឧបជ្ឈាយវេវចនំ វា អាចរិយវេវចនំ វា សទ្ធិវិហារិកវេវចនំ វា អន្តេវាសិកវេវចនំ វា សមានុបជ្ឈាយកវេវចនំ វា សមានាចរិយកវេវចនំ វា សព្រហ្មចារីវេវចនំ វា គិហិវេវចនំ វា ឧបាសកវេវចនំ វា អារាមិកវេវចនំ វា សាមណេរវេវចនំ វា តិត្ថិយវេវចនំ វា តិត្ថិយសាវកវេវចនំ វា អស្សមណវេវចនំ វា អសក្យបុត្តិយវេវចនំ វា យេហិ អាការេហិ យេហិ លិង្គេហិ យេហិ និមិត្តេហិ វទតិ វិញ្ញាបេតិ ។ ឯវំបិ ខោ ភិក្ខវេ ទុព្ពល្យាវិកម្មញ្ចេវ ហោតិ សិក្ខា ច បច្ចក្ខាតា ។



សិក្ខាក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា វិន័យក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា បាតិមោក្ខក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា ឧទ្ទេសក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា ឧបជ្ឈាយ៍ក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា អាចារ្យក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា សទ្ធិវិហារិកក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា អន្តេវាសិកក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា សមានុបជ្ឈាយកៈក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា សមានាចរិយកៈក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា សព្រហ្មចារីក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា គ្រហស្ថក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា ឧបាសកក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា អារាមិកៈក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា សាមណេរក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា តិត្ថិយក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា តិត្ថិយសាវកក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា មិនមែនជាសមណៈក្តី ជាពាក្យផ្លាស់ប្តូរដោយពាក្យថា មិនមែនជាសក្យបុត្រក្តី ភិក្ខុនិយាយឲ្យគេដឹងច្បាស់ដោយពាក្យអប្បលាខោះ ដែលជាអាការ ពោលលាសិក្ខា) ដែលជាភេទ ដែលជានិមិត្ត ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះហៅថា ការធ្វើឲ្យជាក់ច្បាស់នូវភាវៈនៃខ្លួន ជាបុគ្គលមានកំឡាំងថយ ទាំងសិក្ខាក៏ហៅថា ភិក្ខុបានពោលលាហើយ ។

(៣៦) កថញ្ច ភិក្ខវេ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ ឥធ ភិក្ខវេ ភិក្ខុ(១) យេហិ អាការេហិ យេហិ លិង្គេហិ យេហិ និមិត្តេហិ សិក្ខា បច្ចក្ខាតា ហោតិ តេហិ អាការេហិ តេហិ លិង្គេហិ តេហិ និមិត្តេហិ ឧម្មត្តកោ សិក្ខំ បច្ចក្ខាតិ ។ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ ឧម្មត្តកស្ស សន្តិកេ សិក្ខំ បច្ចក្ខាតិ ។ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ ខិត្តចិត្តោ សិក្ខំ បច្ចក្ខាតិ ។ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ ខិត្តចិត្តស្ស សន្តិកេ សិក្ខំ បច្ចក្ខាតិ ។ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ វេទនដ្ដោ សិក្ខំ បច្ចក្ខាតិ ។ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ វេទនដ្ដស្ស សន្តិកេ សិក្ខំ បច្ចក្ខាតិ ។ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ ទេវតាយ សន្តិកេ សិក្ខំ បច្ចក្ខាតិ ។ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ តិរច្ឆានគតស្ស សន្តិកេ សិក្ខំ បច្ចក្ខាតិ ។ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ អរិយកេន មិលក្ខកស្ស សន្តិកេ សិក្ខំ បច្ចក្ខាតិ ។ សោ ច(២) ន បដិវិជានាតិ អប្បច្ចក្ខាតា ហោតិ សិក្ខា ។

១ ឱកាសបិយាយច្ឆមកេសុ ភិក្ខុ បាឋោ ន ទិស្សតិ ។ ២ ឱយកោ សោ ចាតិ លិខិតំ ។



(៣៦) ម្នាលភិក្ខុទាំងឡាយ សិក្ខាដែលភិក្ខុមិនបានលាលះនោះ តើដូចម្តេច ។ ម្នាលភិក្ខុទាំងឡាយ សិក្ខាដែលភិក្ខុគប្បីលាលះនោះ បានលាលះហើយដោយអាការ ទីសំគេ និងនិមិត្តទាំងឡាយណា ។ ភិក្ខុជាមនុស្សឆ្កួត ក៏បានលាលាសិក្ខាដោយអាការ ទីសំគេ និងនិមិត្តទាំងឡាយនោះៗ ដែរ ។ សិក្ខាមិនហៅថាភិក្ខុឆ្កួតនោះបានលាលះឡើយ ។ ភិក្ខុលាលាសិក្ខាក្នុងសំណាក់បុគ្គលឆ្កួត ។ សិក្ខាមិនហៅថាភិក្ខុបានលាលះទេ ។ ភិក្ខុមានចិត្តរវើរវាយហើយលាលាសិក្ខា ។ សិក្ខាមិនហៅថាភិក្ខុបានលាលះទេ ។ ភិក្ខុលាលាសិក្ខាក្នុងសំណាក់បុគ្គលមានចិត្តរវើរវាយហើយ ។ សិក្ខាមិនហៅថាភិក្ខុបានលាលះទេ ។ ភិក្ខុដែលវេទនាគ្របសង្កត់ លាលាសិក្ខា ។ សិក្ខាមិនហៅថាភិក្ខុបានលាលះទេ ។ ភិក្ខុលាលាសិក្ខាក្នុងសំណាក់បុគ្គលដែលវេទនាគ្របសង្កត់ ។ សិក្ខាមិនហៅថាភិក្ខុបានលាលះទេ ។ ភិក្ខុលាលាសិក្ខាក្នុងសំណាក់ទេវតា ។ សិក្ខាមិនហៅថាភិក្ខុបានលាលះទេ ។ ភិក្ខុលាលាសិក្ខាក្នុងសំណាក់សត្វតិរច្ឆាន ។ សិក្ខាមិនហៅថាភិក្ខុបានលាលះទេ ។ ភិក្ខុលាលាសិក្ខាក្នុងសំណាក់ជនជាមិលក្ខុជាតិ ដោយអរិយកភាសា ។ បើជនជាមិលក្ខុជាតិនោះ មិនដឹងសេចក្តីច្បាស់ទេ សិក្ខាក៏មិនហៅថា ភិក្ខុបានលាលះទេ ។

មិលក្ខកេន អរិយកស្ស សន្តិកេ សិក្ខំ បច្ចក្ខាតិ ។ សោ ច ន បដិវិជានាតិ អបច្ចក្ខាតា ហោតិ សិក្ខា ។ អរិយកេន អរិយកស្ស សន្តិកេ សិក្ខំ បច្ចក្ខាតិ ។ សោ ច ន បដិវិជានាតិ អបច្ចក្ខាតា ហោតិ សិក្ខា ។ មិលក្ខកេន មិលក្ខកស្ស សន្តិកេ សិក្ខំ បច្ចក្ខាតិ ។ សោ ច ន បដិវិជានាតិ អបច្ចក្ខាតា ហោតិ សិក្ខា ។ ទវាយ សិក្ខំ បច្ចក្ខាតិ ។ អបច្ចក្ខាតា ហោតិ សិក្ខា ។ រវាយ សិក្ខំ បច្ចក្ខាតិ ។ អបច្ចក្ខាតា ហោតិ សិក្ខា ។ អសាវេតុកាមោ សាវេតិ ។ អបច្ចក្ខាតា ហោតិ សិក្ខា ។ សាវេតុកាមោ ន សាវេតិ ។ អបច្ចក្ខាតា ហោតិ សិក្ខា ។ អវិញ្ញុស្ស សាវេតិ ។ អបច្ចក្ខាតា ហោតិ សិក្ខា ។ វិញ្ញុស្ស ន សាវេតិ ។





ភិក្ខុពោលលាសិក្ខាក្នុងសំណាក់ជនជាអរិយកជាតិដោយមិលក្ខកភាសា ។ បើជនជាអរិយកជាតិនោះ មិនដឹងសេចក្តីច្បាស់ទេ សិក្ខាមិនហៅថាភិក្ខុបានពោលលាទេ ។ ភិក្ខុពោលលាសិក្ខាក្នុងសំណាក់ជនជាអរិយកជាតិដោយអរិយកភាសា ។ បើជនជាអរិយកជាតិនោះមិនដឹងសេចក្តីច្បាស់ទេ សិក្ខាមិនហៅថាភិក្ខុបានពោលលាឡើយ ។ ភិក្ខុពោលលាសិក្ខាក្នុងសំណាក់ជនជាមិលក្ខកជាតិដោយមិលក្ខកភាសា ។ បើជនជាមិលក្ខកជាតិនោះ មិនដឹងសេចក្តីច្បាស់ទេ សិក្ខាហៅថា ភិក្ខុមិនបានពោលលាឡើយ ។ ភិក្ខុពោលលាសិក្ខាជាល្បែងលេង ។ សិក្ខាហៅថាភិក្ខុមិនបានពោលលាឡើយ ។ ភិក្ខុពោលលាសិក្ខាដោយភ្លាត់មាត់ ។ សិក្ខាហៅថាភិក្ខុមិនបានពោលលាឡើយ ។ ភិក្ខុមិនមានប្រាថ្នាឲ្យអ្នកដទៃឮ តែបែរជាឲ្យឮវិញ[១] ។ សិក្ខាហៅថាភិក្ខុមិនបានពោលលាឡើយ ។ ភិក្ខុមានប្រាថ្នាឲ្យអ្នកដទៃឮ តែបែរជាមិនឲ្យឮវិញ[២] ។ សិក្ខាហៅថាភិក្ខុមិនបានពោលលាឡើយ ។ ភិក្ខុពោលលាសិក្ខាក្នុងសំណាក់មនុស្សដែលមិនដឹងសេចក្តីច្បាស់ ។ សិក្ខាហៅថាភិក្ខុមិនបានពោលលាឡើយ ។ ភិក្ខុមិនពោលលាសិក្ខាឲ្យឮដល់មនុស្សដែលដឹងសេចក្តីច្បាស់ ។

១ សំដៅភិក្ខុដែលកំពុងហ្វឹកហាត់ក្តី សាធ្យាយក្តី រៀនក្តី ទះក្តួញក្តី គណិតក្តី [illegible] លាសិក្ខា [illegible] ។ ២ សំដៅភិក្ខុដែលមិនបញ្ចេញវចីភេទឲ្យអ្នកដទៃឮ ។

អប្បច្ចក្ខាតា ហោតិ សិក្ខា ។ សព្វសោ វា បន ន សាវេតិ ។ អប្បច្ចក្ខាតា ហោតិ សិក្ខា ។ ឯវំ ខោ ភិក្ខវេ អប្បច្ចក្ខាតា ហោតិ សិក្ខា ។

(៣៣) មេថុនធម្មោ នាម យោ សោ អសទ្ធម្មោ គាមធម្មោ វសលធម្មោ ទុដ្ឋុល្លំ ឱទកន្តិកំ រហស្សំ ទ្វយំទ្វយសមាបត្តិ ឯសោ មេថុនធម្មោ នាម ។

(៣៤) បដិសេវតិ នាម យោ និមិត្តេន និមិត្តំ អង្គជាតេន អង្គជាតំ អន្តមសោ តិលផលមត្តម្បិ បវេសេតិ ឯសោ បដិសេវតិ នាម ។

(៣៥) អន្តមសោ តិរច្ឆានគតាយបីតិ តិរច្ឆានគតាយបិ មេថុនំ ធម្មំ បដិសេវិត្វា អស្សមណោ ហោតិ អសក្យបុត្តិយោ បគេវ មនុស្សិត្ថិយា តេន វុច្ចតិ អន្តមសោ តិរច្ឆានគតាយបីតិ ។



សិក្ខា ហៅថាភិក្ខុមិនបានពោលលាឡើយ ។ ម្យ៉ាងទៀត ភិក្ខុពោលលាសិក្ខាខ្សឹបៗ តែមិនឲ្យអ្នកដទៃដឹង ។ សិក្ខាហៅថាភិក្ខុមិនបានពោលលាឡើយ ។ ម្នាលភិក្ខុទាំងឡាយ យ៉ាងនេះឯង សិក្ខាហៅថា ភិក្ខុមិនបានពោលលាឡើយ ។

(៣៣) ធម៌ដែលហៅថា មេថុន នោះគឺធម៌ដែលជារបស់អសប្បុរស ធម៌របស់អ្នកស្រុក ធម៌របស់មនុស្សថោកទាប ឬអំពើអាក្រក់ មានកិច្ចលាងដោយទឹកជាទីបំផុត ជាអំពើដែលធ្វើពីរនាក់នៃរូប រួមគ្នាក្នុងទីកំបាំង នេះឯងហៅថា មេថុនធម្ម ។

(៣៤) បុគ្គលណា ឲ្យនិមិត្តខ្លួនចូលទៅដោយនិមិត្ត (គេ) ឲ្យអង្គកំណើត (ខ្លួន) ចូលទៅដោយអង្គកំណើត (គេ) ដោយហោចទៅសូម្បីអស់ទីត្រឹមតែ ១ គ្រាប់ល្ង បុគ្គលនោះហៅថា សេព ។

(៣៥) ត្រង់ពាក្យថា ដោយហោចទៅសូម្បីដោយសត្វតិរច្ឆានញី នេះស្រាយថា ភិក្ខុសេពនូវមេថុនធម្ម សូម្បីដោយសត្វតិរច្ឆានញី ក៏មិនមែនជាសមណៈ មិនមែនជាសក្យបុត្រឡើយ ចាំបាច់និយាយទៅថ្វីដល់ភិក្ខុដែលសេពមេថុនធម្ម ដោយស្រីមនុស្ស ព្រោះហេតុនោះ បានជាហៅថា (ភិក្ខុសេពមេថុនធម្ម) យ៉ាងហោចទៅសូម្បីដោយសត្វតិរច្ឆានញី (ក៏ត្រូវអាបត្តិបារាជិក) ។

(៣៦) បារាជិកោ ហោតីតិ សេយ្យថាបិ នាម បុរិសោ សីសច្ឆិន្នោ អភព្វោ តេន សរីរពន្ធនេន ជីវិតុំ ឯវមេវ ភិក្ខុ មេថុនំ ធម្មំ បដិសេវិត្វា អស្សមណោ ហោតិ អសក្យបុត្តិយោ តេន វុច្ចតិ បារាជិកោ ហោតីតិ ។

(៣៧) អសំវាសោតិ សំវាសោ នាម ឯកកម្មំ ឯកុទ្ទេសោ សមសិក្ខតា ឯសោ សំវាសោ នាម សោ តេន សទ្ធឹ នត្ថិ តេន វុច្ចតិ អសំវាសោតិ ។

(៣៨) តិស្សោ ឥត្ថិយោ មនុស្សិត្ថី អមនុស្សិត្ថី តិរច្ឆានគតិត្ថី ។ តយោ ឧភតោព្យញ្ជនកា មនុស្សឧភតោព្យញ្ជនកោ អមនុស្សឧភតោព្យញ្ជនកោ តិរច្ឆានគតឧភតោព្យញ្ជនកោ ។ តយោ បណ្ឌកា មនុស្សបណ្ឌកោ អមនុស្សបណ្ឌកោ តិរច្ឆានគតបណ្ឌកោ ។ តយោ បុរិសា មនុស្សបុរិសោ អមនុស្សបុរិសោ តិរច្ឆានគតបុរិសោ ។ មនុស្សិត្ថិយា តយោ មគ្គេ មេថុនំ ធម្មំ បដិសេវន្តស្ស



(៣៦) ត្រង់ពាក្យថា ភិក្ខុត្រូវអាបត្តិបារាជិក អធិប្បាយថា ធម្មតា បុរសដែលមានក្បាលដាច់ មិនអាចនឹងតភ្ជាប់ដោយសរីរៈនោះ ហើយរស់នៅវិញបាន យ៉ាងណាមិញ ភិក្ខុតែសេពមេថុនធម្មហើយ ក៏មិនមែនជាសមណៈ មិនមែនជាសក្យបុត្រ យ៉ាងនោះឯង ព្រោះហេតុនោះ បានជាហៅថា ត្រូវអាបត្តិបារាជិក ។

(៣៧) ត្រង់ពាក្យថា គេសំវាសគ្មាន អធិប្បាយថា សង្ឃកម្មជាមួយគ្នាក្តី ឧទ្ទេសជាមួយគ្នាក្តី ការសិក្សាស្មើគ្នាក្តី នេះឯងហៅថា សំវាស សំវាសនោះមិនមានជាមួយនឹងភិក្ខុដែលត្រូវអាបត្តិបារាជិកនោះទេ ព្រោះហេតុនោះ បានជាហៅថា គេសំវាសគ្មាន ។

(៣៨) ស្រីមាន ៣ ពួក គឺស្រីមនុស្ស ១ ស្រីអមនុស្ស ១ សត្វតិរច្ឆានញី ១ ។ ឧភតោព្យញ្ជនក គឺជនដែលមានភេទពីរ មាន ៣ ពួក គឺមនុស្សមានភេទពីរ ១ អមនុស្សមានភេទពីរ ១ តិរច្ឆានមានភេទពីរ ១ ។ បណ្ឌក គឺជនខ្ទើយមាន ៣ ពួក គឺមនុស្សខ្ទើយ ១ អមនុស្សខ្ទើយ ១ តិរច្ឆានខ្ទើយ ១ ។ ប្រុសមាន ៣ ពួក គឺមនុស្សប្រុស ១ អមនុស្សប្រុស ១ តិរច្ឆានឈ្មោល ១ ។ កាលបើភិក្ខុសេពមេថុនធម្មចំពោះផ្លូវមគ្គទាំង ៣

អាបត្តិ បារាជិកស្ស វច្ចមគ្គេ បស្សាវមគ្គេ មុខេ ។ អមនុស្សិត្ថិយា ។ បេ ។ តិរច្ឆានគតិត្ថិយា តយោ មគ្គេ មេថុនំ ធម្មំ បដិសេវន្តស្ស អាបត្តិ បារាជិកស្ស វច្ចមគ្គេ បស្សាវមគ្គេ មុខេ ។ មនុស្សឧភតោព្យញ្ជនកស្ស ។ បេ ។ អមនុស្សឧភតោព្យញ្ជនកស្ស ។ បេ ។ តិរច្ឆានគតឧភតោព្យញ្ជនកស្ស តយោ មគ្គេ មេថុនំ ធម្មំ បដិសេវន្តស្ស អាបត្តិ បារាជិកស្ស វច្ចមគ្គេ បស្សាវមគ្គេ មុខេ ។ មនុស្សបណ្ឌកស្ស ទ្វេ មគ្គេ មេថុនំ ធម្មំ បដិសេវន្តស្ស អាបត្តិ បារាជិកស្ស វច្ចមគ្គេ មុខេ ។ អមនុស្សបណ្ឌកស្ស ។ បេ ។ តិរច្ឆានគតបណ្ឌកស្ស ។ បេ ។ អមនុស្សបុរិសស្ស ។ បេ ។ តិរច្ឆានគតបុរិសស្ស ទ្វេ មគ្គេ មេថុនំ ធម្មំ បដិសេវន្តស្ស អាបត្តិ បារាជិកស្ស វច្ចមគ្គេ មុខេ ។

(៣៩) ភិក្ខុស្ស សេវនចិត្តំ ឧបដ្ឋិតេ មនុស្សិត្ថិយា វច្ចមគ្គំ អង្គជាតំ បវេសេន្តស្ស អាបត្តិ បារាជិកស្ស ។ ភិក្ខុស្ស សេវនចិត្តំ ឧបដ្ឋិតេ មនុស្សិត្ថិយា បស្សាវមគ្គំ អង្គជាតំ បវេសេន្តស្ស អាបត្តិ បារាជិកស្ស ។ ភិក្ខុស្ស សេវនចិត្តំ ឧបដ្ឋិតេ



គឺវច្ចមគ្គ (ទ្វារធំ) ១ បស្សាវមគ្គ (ទ្វារតូច) ១ មុខមគ្គ (ទ្វារមាត់) ១ (ទ្វារមគ្គណាមួយ) របស់មនុស្សស្រី ត្រូវអាបត្តិបារាជិក ។ កាលបើភិក្ខុសេពមេថុនធម្មចំពោះទ្វារមគ្គទាំង ៣ គឺវច្ចមគ្គ ១ បស្សាវមគ្គ ១ មុខមគ្គ ១ (ទ្វារមគ្គណាមួយ) របស់អមនុស្សស្រី ។ បេ ។ របស់តិរច្ឆានញី ត្រូវអាបត្តិបារាជិក ។ កាលបើភិក្ខុសេពមេថុនធម្មចំពោះទ្វារមគ្គទាំង ៣ គឺវច្ចមគ្គ ១ បស្សាវមគ្គ ១ មុខមគ្គ ១ (ទ្វារមគ្គណាមួយ) របស់មនុស្សមានភេទពីរ ។ បេ ។ របស់អមនុស្សមានភេទពីរ ។ បេ ។ របស់តិរច្ឆានមានភេទពីរ ត្រូវអាបត្តិបារាជិក ។ កាលបើភិក្ខុសេពមេថុនធម្មចំពោះទ្វារមគ្គទាំងពីរ គឺវច្ចមគ្គ ១ មុខមគ្គ ១ (ទ្វារមគ្គណាមួយ) របស់មនុស្សខ្ទើយ ត្រូវអាបត្តិបារាជិក ។ កាលបើភិក្ខុសេពមេថុនធម្មចំពោះទ្វារមគ្គទាំងពីរ គឺ វច្ចមគ្គ១ មុខមគ្គ១ (ទ្វារមគ្គណាមួយ) របស់អមនុស្សខ្ទើយ ។ បេ ។ របស់តិរច្ឆានខ្ទើយ ។ បេ ។ របស់អមនុស្សប្រុស ។ បេ ។ របស់តិរច្ឆានឈ្មោល ត្រូវអាបត្តិបារាជិក ។

(៣៩) ភិក្ខុមានចិត្តចង់សេពផ្ដួចផ្ដើមឡើង ហើយបញ្ចូលអង្គជាតរបស់ខ្លួនទៅកាន់ទ្វារវច្ចមគ្គមនុស្សស្រី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានចិត្តចង់សេពផ្ដួចផ្ដើមឡើង ហើយបញ្ចូលអង្គជាតរបស់ខ្លួនទៅកាន់ទ្វារបស្សាវមគ្គមនុស្សស្រី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានចិត្តចង់សេពផ្ដួចផ្ដើមឡើង

មនុស្សិត្ថិយា មុខំ អង្គជាតំ បវេសេន្តស្ស អាបត្តិ បារាជិកស្ស ។ ភិក្ខុស្ស សេវនចិត្តំ ឧបដ្ឋិតេ អមនុស្សិត្ថិយា ។បេ។ តិរច្ឆានគតិត្ថិយា មនុស្សឧភតោព្យញ្ជនកស្ស អមនុស្សឧភតោព្យញ្ជនកស្ស តិរច្ឆានគតឧភតោព្យញ្ជនកស្ស វច្ចមគ្គំ បស្សាវមគ្គំ មុខំ អង្គជាតំ បវេសេន្តស្ស អាបត្តិ បារាជិកស្ស ។ ភិក្ខុស្ស សេវនចិត្តំ ឧបដ្ឋិតេ មនុស្សបណ្ឌកស្ស វច្ចមគ្គំ ។បេ។ មុខំ អង្គជាតំ បវេសេន្តស្ស អាបត្តិ បារាជិកស្ស ។ ភិក្ខុស្ស សេវនចិត្តំ ឧបដ្ឋិតេ អមនុស្សបណ្ឌកស្ស ។បេ។ តិរច្ឆានគតបណ្ឌកស្ស មនុស្សបុរិសស្ស អមនុស្សបុរិសស្ស តិរច្ឆានគតបុរិសស្ស វច្ចមគ្គំ មុខំ អង្គជាតំ បវេសេន្តស្ស អាបត្តិ បារាជិកស្ស ។

(៦០) ភិក្ខុបច្ចត្ថិកា មនុស្សិត្ថឹ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ ភិក្ខុបច្ចត្ថិកា មនុស្សិត្ថឹ ភិក្ខុស្ស សន្តិកេ អានេត្វា



ហើយបញ្ចូលអង្គជាតរបស់ខ្លួនទៅកាន់ទ្វារមុខមគ្គមនុស្សស្រី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានចិត្តចង់សេពផ្តួចផ្តើមឡើង ហើយបញ្ចូលអង្គជាតរបស់ខ្លួនទៅកាន់ទ្វារវច្ចមគ្គ ទ្វារបស្សាវមគ្គ ទ្វារមុខមគ្គ (ទ្វារមគ្គណាមួយ) របស់អមនុស្សស្រី ។បេ។ របស់តិរច្ឆានញី របស់មនុស្សមានភេទពីរ របស់អមនុស្សមានភេទពីរ របស់តិរច្ឆានមានភេទពីរ ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានចិត្តចង់សេពតាំងឡើងប្រាកដ ហើយបញ្ចូលអង្គជាតរបស់ខ្លួនទៅកាន់ទ្វារវច្ចមគ្គ ។បេ។ មុខមគ្គ របស់មនុស្សខ្ទើយ ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានចិត្តចង់សេពតាំងឡើងប្រាកដ ហើយបញ្ចូលអង្គជាតរបស់ខ្លួនទៅកាន់ទ្វារវច្ចមគ្គ ទ្វារមុខមគ្គ (ទ្វារមគ្គណាមួយ) របស់អមនុស្សខ្ទើយ ។បេ។ របស់តិរច្ឆានខ្ទើយ របស់មនុស្សប្រុស របស់អមនុស្សប្រុស របស់តិរច្ឆានឈ្មោល ត្រូវអាបត្តិបារាជិក ។

(៦០) ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រី (១ នាក់) មកកាន់សំណាក់ភិក្ខុ (១ រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមទ្វារវច្ចមគ្គ (ស្រីនោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រី (១ នាក់)

វច្ចមគ្គេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ ន សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ ភិក្ខុបច្ចត្ថិកា មនុស្សិត្ថឹ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ ន សាទិយតិ បវិដ្ឋំ ន សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ ភិក្ខុបច្ចត្ថិកា មនុស្សិត្ថឹ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ ន សាទិយតិ បវិដ្ឋំ ន សាទិយតិ ឋិតំ ន សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ ភិក្ខុបច្ចត្ថិកា មនុស្សិត្ថឹ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន អង្គជាតំ អភិនិសីទេន្តិ ។



មកកាន់សំណាក់ភិក្ខុ (១ រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមទ្វារវច្ចមគ្គ (ស្រីនោះ) ។ បើភិក្ខុនោះមិនត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅ តែជាត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រី (១ នាក់) មកកាន់សំណាក់ភិក្ខុ (១ រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមទ្វារវច្ចមគ្គ (ស្រីនោះ) ។ បើភិក្ខុនោះ មិនត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី មិនត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី តែជាត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រី (១ នាក់) មកកាន់សំណាក់ភិក្ខុ (១ រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមទ្វារវច្ចមគ្គ (ស្រីនោះ) ។ បើភិក្ខុនោះមិនត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី មិនត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី មិនត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី តែជាត្រេកអរនឹងអង្គជាតដែលបន្ថយចេញ ត្រូវអាបត្តិបារាជិក ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រី (១ នាក់) មកកាន់សំណាក់ភិក្ខុ (១ រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ)

សោ ចេ បវេសនំ ន សាទិយតិ បវិដ្ឋំ ន សា-
ទិយតិ ឋិតំ ន សាទិយតិ ឧទ្ធរណំ ន សាទិយតិ
អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា មនុស្សិត្ថឹ ភិក្ខុស្ស សន្តិ-
កេ អានេត្វា បស្សាវមគ្គេន ។ បេ ។ មុខេន អង្គជាតំ
អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ
សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ
បារាជិកស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។
ភិក្ខុបច្ចត្ថិកា មនុស្សិត្ថឹ ជាគរន្តឹ សុត្តំ មត្តំ ឧម្មត្តំ
បមត្តំ មតំ អក្ខាយិតំ មតំ យេភុយ្យេន អក្ខាយិ-
តំ ។ បេ ។ អាបត្តិ បារាជិកស្ស ។ មតំ យេភុយ្យេ-
ន ខាយិតំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន



ទៅតាមច្រកវច្ចមគ្គ (ស្រីនោះ) ។ បើភិក្ខុមិនត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី មិនត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី មិនត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងច្រកមគ្គនោះ) ក្តី មិនត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រី (១នាក់) មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមច្រកបស្សាវមគ្គ ។បេ។ ច្រកមុខមគ្គក្តី (របស់ស្រីនោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងច្រកមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។បេ។ បើភិក្ខុនោះមិនត្រេកអរ ក៏ពុំត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រី (១នាក់) ដែលនៅភ្ញាក់ដឹងខ្លួនក្តី ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលខូចស្មារតីក្តី ដែលស្លាប់ហើយមានច្រកមគ្គ សត្វមិនទាន់ស៊ីក្តី ដែលស្លាប់ហើយមានច្រកមគ្គ សត្វពុំទាន់ស៊ីជាច្រើនក្តី ។បេ។ ត្រូវអាបត្តិបារាជិក ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រីស្លាប់ (១នាក់) ដែលមានច្រកមគ្គ សត្វស៊ីហើយជាច្រើន (នៅសល់បន្តិចបន្តួច) មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមច្រកវច្ចមគ្គ

បស្សាវមគ្គេន មុខេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ ថុល្លច្ចយស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា អមនុស្សិត្ថិំ ។ បេ ។ តិរច្ឆានគតិត្ថិំ មនុស្សឧភតោព្យញ្ជនកំ អមនុស្សឧភតោព្យញ្ជនកំ តិរច្ឆានគតឧភតោព្យញ្ជនកំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន បស្សាវមគ្គេន មុខេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា តិរច្ឆានគតឧភតោព្យញ្ជនកំ ជាគរន្តិំ សុត្តំ មត្តំ ឧម្មត្តំ បមត្តំ មតំ អក្ខាយិតំ មតំ យេភុយ្យេន អក្ខាយិតំ ។ បេ ។ អាបត្តិ បារាជិកស្ស ។ បេ ។



ឬទ្វារបស្សាវមគ្គ ឬទ្វារមុខមគ្គ (របស់មនុស្សស្រីស្លាប់នោះ) ។ បើភិក្ខុនោះ ត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ទយចេញក្តី ត្រូវអាបត្តិថុល្លច្ច័យ ។ បេ ។ បើភិក្ខុនោះ មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកអមនុស្សស្រី ។ បេ ។ តិរច្ឆានញី មនុស្សមានភេទពីរ អមនុស្សមានភេទពីរ តិរច្ឆានមានភេទពីរ មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមទ្វារវច្ចមគ្គ ឬទ្វារបស្សាវមគ្គ ឬទ្វារមុខមគ្គ (របស់ជនទាំងនោះ) ។ បើភិក្ខុនោះ ត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ទយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។ បើមិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកតិរច្ឆានមានភេទពីរ ដែលនៅភ្ញាក់ដឹងខ្លួនក្តី ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលភ្លេចស្មារតីក្តី ដែលស្លាប់ហើយមានទ្វារមគ្គសត្វមិនទាន់ស៊ីក្តី ដែលស្លាប់ហើយមានទ្វារមគ្គសត្វមិនទាន់ស៊ីដោយច្រើនក្តី ។ បេ ។ ត្រូវអាបត្តិបារាជិក ។ បេ ។

មតំ យេភុយ្យេន ខាយិតំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន បស្សាវមគ្គេន មុខេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ ថុល្លច្ចយស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា មនុស្សបណ្ឌកំ ។ បេ ។ អមនុស្សបណ្ឌកំ តិរច្ឆានគតបណ្ឌកំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន ។ បេ ។ មុខេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ ទុក្កដស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា តិរច្ឆានគតបណ្ឌកំ ជាគរន្តំ



ពួកភិក្ខុជាសត្រូវនាំយកតិរច្ឆានមានភេទញីដែលស្លាប់ហើយ មានទ្វារមគ្គសត្វស៊ីហើយដោយច្រើន (នៅសល់បន្តិចបន្តួច) មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមទ្វារវច្ចមគ្គ ឬទ្វារបស្សាវមគ្គ ឬទ្វារមុខមគ្គ (របស់តិរច្ឆានមានភេទញីដែលស្លាប់ហើយនោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិថុល្លច្ច័យ ។ បេ ។ (បើភិក្ខុនោះ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សខ្ទើយ ។ បេ ។ អមនុស្សខ្ទើយ តិរច្ឆានខ្ទើយ មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមទ្វារវច្ចមគ្គក្តី ។ បេ ។ តាមទ្វារមុខមគ្គក្តី (របស់ជនទាំងនោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិទុក្កដ ។ បេ ។ បើមិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកតិរច្ឆានខ្ទើយដែលនៅភ្ញាក់ដឹងខ្លួនក្តី

សុត្តំ មត្តំ ឧម្មត្តំ បមត្តំ មតំ អក្ខាយិតំ មតំ យេភុយ្យេន អក្ខាយិតំ ។ បេ ។ អាបត្តិ បារាជិកស្ស ។ បេ ។ មតំ យេភុយ្យេន ខាយិតំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន ។ បេ ។ មុខេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ ថុល្លច្ចយស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា មនុស្សបុរិសំ ។ បេ ។ អមនុស្សបុរិសំ ។ បេ ។ តិរច្ឆានគតបុរិសំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន ។ បេ ។ មុខេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។



ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលខ្វេសប្រហែសក្តី ដែលស្លាប់ហើយមានទ្វារមគ្គសត្វមិនទាន់ស៊ីក្តី ដែលស្លាប់ហើយមានទ្វារមគ្គសត្វមិនទាន់ស៊ីហើយជាច្រើនក្តី ។ បេ ។ ត្រូវអាបត្តិបារាជិក ។ បេ ។ ពួកភិក្ខុជាសត្រូវ នាំយកតិរច្ឆានញីដែលស្លាប់ហើយ មានទ្វារមគ្គសត្វស៊ីហើយជាច្រើន (នៅសល់បន្តិចបន្តួច) មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមទ្វារវច្ចមគ្គក្តី ។ បេ ។ ទ្វារមុខមគ្គក្តី (របស់តិរច្ឆានញីដែលស្លាប់ហើយនោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិថុល្លច្ច័យ ។ បេ ។ (បើភិក្ខុនោះ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវ នាំយកមនុស្សប្រុស ។ បេ ។ អមនុស្សប្រុស ។ បេ ។ តិរច្ឆានឈ្មោល មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (ភិក្ខុនោះ) ទៅតាមទ្វារវច្ចមគ្គក្តី ។ បេ ។ មុខមគ្គក្តី (របស់ជនទាំងនោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។

ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា តិរច្ឆាន-គតបុរិសំ ជាគរន្តំ សុត្តំ មត្តំ ឧម្មត្តំ បមត្តំ មតំ អក្ខាយិតំ មតំ យេភុយ្យេន អក្ខាយិតំ ។ បេ ។ អាបត្តិ បារាជិកស្ស ។ បេ ។ មតំ យេភុយ្យេន ខាយិតំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន ។ បេ ។ មុខេន អង្គជាតំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ ថុល្លច្ចយស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។

[៦១] ភិក្ខុបច្ចត្ថិកា មនុស្សិត្ថឹ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន បស្សាវមគ្គេន មុខេន អង្គជាតំ អភិនិសីទេន្តិ សន្ថតាយ អសន្ថតស្ស អសន្ថតាយ



(បើភិក្ខុនោះ)មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកតិរច្ឆានឈ្មោល ដែលនៅភ្ញាក់ដឹងខ្លួនក្តី ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលខូចស្មារតីក្តី ដែលស្លាប់ហើយមានទ្វារមគ្គសត្វមិនទាន់ស៊ីក្តី ដែលស្លាប់ហើយមានទ្វារមគ្គសត្វមិនទាន់ស៊ីដោយច្រើនក្តី ។ បេ ។ ត្រូវអាបត្តិបារាជិក ។ បេ ។ ពួកភិក្ខុជាសត្រូវនាំយកតិរច្ឆានឈ្មោលដែលស្លាប់ហើយមានទ្វារមគ្គសត្វស៊ីហើយដោយច្រើន (នៅសល់បន្តិចបន្តួច) មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាតភិក្ខុនោះទៅតាមទ្វារវច្ចមគ្គ ។ បេ ។ ទ្វារមុខមគ្គ (របស់តិរច្ឆាននោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (គង់ទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិថុល្លច្ច័យ ។ បេ ។ (បើភិក្ខុនោះ)មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។

(៦១) ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រី (១នាក់) មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (របស់ភិក្ខុនោះ) ដែលគ្មានស្រោមស្រទាប់តាមទ្វារវច្ចមគ្គ ឬបស្សាវមគ្គ ឬមុខមគ្គ (របស់ស្រី) ដែលមានស្រោមស្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) ដែលមានស្រោមស្រទាប់

សន្ថតស្ស សន្ថតាយ សន្ថតស្ស អសន្ថតាយ អសន្ថ-តស្ស ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សា-ទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា មនុស្សិត្ថឹ ជាគរន្តឹ សុត្តំ មត្តំ ឧម្មត្តំ បមត្តំ មតំ អក្ខាយិតំ មតំ យេភុយ្យេន អក្ខាយិ-តំ ។ បេ ។ អាបត្តិ បារាជិកស្ស ។ បេ ។ មតំ យេភុយ្យេន ខាយិតំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន បស្សាវមគ្គេន មុខេន អង្គជាតំ អភិនិសី-ទេន្តិ សន្ថតាយ អសន្ថតស្ស អសន្ថតាយ សន្ថតស្ស



(តាមទ្វារមគ្គរបស់ស្រី)ដែលគ្មានស្រោមប្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) ដែលមានស្រោមប្រទាប់ (តាមទ្វារមគ្គរបស់ស្រី) ដែលមានស្រោមប្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) គ្មានស្រោមប្រទាប់ (តាមទ្វារមគ្គរបស់ស្រី) គ្មានស្រោមប្រទាប់ក្តី ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។ (បើភិក្ខុនោះ) មិនត្រេកអរទេ គឺមិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សស្រី (១នាក់)ដែលនៅភ្ញាក់ដឹងខ្លួនក្តី ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលខូចស្មារតីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីដោយច្រើនក្តី ។ បេ ។ ត្រូវអាបត្តិបារា-ជិក ។ បេ ។ ពួកភិក្ខុជាសត្រូវនាំយកស្រីដែលស្លាប់ហើយសត្វស៊ីហើយដោយច្រើន (នៅសល់បន្តិចបន្តួច) មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (របស់ភិក្ខុ) ដែលគ្មានស្រោមប្រទាប់ តាមទ្វារវច្ចមគ្គ ឬទ្វារបស្សាវមគ្គ ឬទ្វារមុខមគ្គ (របស់ស្រី) ដែលមានស្រោមប្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) ដែលមានស្រោមប្រទាប់

សន្ថតាយ សន្ថតស្ស អសន្ថតាយ អសន្ថតស្ស ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា អមនុស្សិត្ថឹ ។ បេ ។ តិរច្ឆានគតិត្ថឹ មនុស្សឧភតោព្យញ្ជនកំ អមនុស្សឧភតោព្យញ្ជនកំ តិរច្ឆានគតឧភតោព្យញ្ជនកំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន បស្សាវមគ្គេន មុខេន អង្គជាតំ អភិនិសីទេន្តិ សន្ថតស្ស អសន្ថតស្ស អសន្ថតស្ស សន្ថតស្ស សន្ថតស្ស សន្ថតស្ស អសន្ថតស្ស អសន្ថតស្ស ។ សោ ចេ



(តាមទ្វារមគ្គរបស់ស្រី) គ្មានស្រោមស្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) មានស្រោមស្រទាប់ (តាមទ្វារមគ្គរបស់ស្រី) មានស្រោមស្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) គ្មានស្រោមស្រទាប់ (តាមទ្វារមគ្គរបស់ស្រី) គ្មានស្រោមស្រទាប់ក្តី ។ បើភិក្ខុនោះ ត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលស្ងៀមនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។ (បើភិក្ខុនោះ) មិនត្រេកអរទេ គឺមិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកអមនុស្សស្រី ។ បេ ។ តិរច្ឆានញី មនុស្សមានភេទពីរ អមនុស្សមានភេទពីរ តិរច្ឆានមានភេទពីរ មកកាន់សំណាក់ភិក្ខុ (១រូប) ហើយបញ្ចូលអង្គជាត (របស់ភិក្ខុ) ដែលគ្មានស្រោមស្រទាប់ទៅតាមទ្វារវច្ចមគ្គ ឬទ្វារបស្សាវមគ្គ ឬទ្វារមុខមគ្គ (របស់ជនទាំងនោះ) ដែលមានស្រោមស្រទាប់ក្តី អង្គជាតភិក្ខុមានស្រោមស្រទាប់ (តាមទ្វារមគ្គរបស់ជនទាំងនោះ) គ្មានស្រោមស្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) ដែលមានស្រោមស្រទាប់ (តាមទ្វារមគ្គរបស់ជនទាំងនោះ) ដែលមានស្រោមស្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) ដែលគ្មានស្រោមស្រទាប់ (តាមទ្វារមគ្គរបស់ជនទាំងនោះ) ដែលគ្មានស្រោមស្រទាប់ក្តី ។ បើភិក្ខុនោះ

បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា តិរច្ឆានគតឧភតោព្យញ្ជនកំ ជាគរន្តំ សុត្តំ មត្តំ ឧម្មត្តំ បមត្តំ មតំ អក្ខាយិតំ មតំ យេភុយ្យេន អក្ខាយិតំ ។ បេ ។ អាបត្តិ បារាជិកស្ស ។ បេ ។ មតំ យេភុយ្យេន ខាយិតំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន ។ បេ ។ មុខេន អង្គជាតំ អភិនិសីទេន្តិ សន្ថតស្ស អសន្ថតស្ស អសន្ថតស្ស សន្ថតស្ស សន្ថតស្ស សន្ថតស្ស



ត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។ (បើភិក្ខុនោះ) មិនត្រេកអរទេ គឺមិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកតិរច្ឆានមានភេទពីរ ដែលនៅភ្ញាក់ដឹងខ្លួនក្តី ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលភ្លេចស្មារតីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីដោយច្រើនក្តី ។ បេ ។ ត្រូវអាបត្តិបារាជិក ។ បេ ។ ពួកភិក្ខុជាសត្រូវនាំយកតិរច្ឆានមានភេទពីរដែលស្លាប់ហើយសត្វស៊ីហើយដោយច្រើន (ទៅសល់បន្តិចបន្តួច) មកកាន់សំណាក់ភិក្ខុ (១ រូប) ហើយបញ្ចូលអង្គជាត (របស់ភិក្ខុ) ដែលគ្មានស្រោមទ្រនាប់ តាមទ្វារវច្ចមគ្គក្តី ។ បេ ។ តាមទ្វារមុខមគ្គក្តី (របស់តិរច្ឆានមានភេទពីរ) ដែលមានស្រោមទ្រនាប់ក្តី អង្គជាត (របស់ភិក្ខុ) ដែលមានស្រោមទ្រនាប់ តាមទ្វារមគ្គ (របស់តិរច្ឆានមានភេទពីរ) ដែលគ្មានស្រោមទ្រនាប់ក្តី អង្គជាត (របស់ភិក្ខុ) មានស្រោមទ្រនាប់ តាមទ្វារមគ្គ (របស់តិរច្ឆានមានភេទពីរ) ដែលមានស្រោមទ្រនាប់ក្តី អង្គជាត

អសន្ថតស្ស អសន្ថតស្ស ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា មនុស្សបណ្ឌកំ អមនុស្សបណ្ឌកំ តិរច្ឆានគតបណ្ឌកំ មនុស្សបុរិសំ អមនុស្សបុរិសំ តិរច្ឆានគតបុរិសំ ភិក្ខុស្ស សន្តិកេ អានេត្វា វច្ចមគ្គេន ។ បេ ។ មុខេន អង្គជាតំ អភិនិសីទេន្តិ សន្ថតស្ស អសន្ថតស្ស អសន្ថតស្ស សន្ថតស្ស សន្ថតស្ស សន្ថតស្ស អសន្ថតស្ស អសន្ថតស្ស ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ



(របស់ភិក្ខុ) គ្មានស្រោមស្រទាប់ តាមទ្វារមគ្គ (របស់តិរច្ឆានមានភេទពីរ) ដែលគ្មានស្រោមស្រទាប់ក្តី ។ បើភិក្ខុនោះ ត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គ) ក្តី ត្រេកអរនឹងអង្គជាតដែលគេបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។ (បើភិក្ខុនោះ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកមនុស្សខ្ទើយ អមនុស្សខ្ទើយ តិរច្ឆានខ្ទើយ មនុស្សប្រុស អមនុស្សប្រុស តិរច្ឆានឈ្មោល មកកាន់សំណាក់ភិក្ខុ (១ រូប) ហើយបញ្ចូលអង្គជាត (របស់ភិក្ខុនោះ) ដែលគ្មានស្រោមស្រទាប់ តាមទ្វារវច្ចមគ្គក្តី ។ បេ ។ តាមទ្វារមុខមគ្គក្តី (របស់ជនទាំងនោះ) ដែលមានស្រោមស្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) ដែលមានស្រោមស្រទាប់ (តាមទ្វារមគ្គរបស់ជនទាំងនោះ) ដែលគ្មានស្រោមស្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) ដែលមានស្រោមស្រទាប់ (តាមទ្វារមគ្គរបស់ជនទាំងនោះ) ដែលមានស្រោមស្រទាប់ក្តី អង្គជាត (របស់ភិក្ខុ) ដែលគ្មានស្រោមស្រទាប់ (តាមទ្វារមគ្គរបស់ជនទាំងនោះ) ដែលគ្មានស្រោមស្រទាប់ក្តី ។ បើភិក្ខុនោះ ត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែល

ឧទ្ធរណំ សាទិយតិ អាបត្តិ ថុល្លច្ចយស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។

[៦៦] ភិក្ខុបច្ចត្ថិកា ភិក្ខុំ មនុស្សិត្ថិយា សន្តិកេ អានេត្វា អង្គជាតេន វច្ចមគ្គំ បស្សាវមគ្គំ មុខំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា ភិក្ខុំ មនុស្សិត្ថិយា ជាគរន្តិយា សុត្តាយ មត្តាយ ឧម្មត្តាយ បមត្តាយ មតាយ អក្ខាយិតាយ មតាយ យេភុយ្យេន អក្ខាយិតាយ ។ បេ ។ អាបត្តិ បារាជិកស្ស ។ បេ ។ មតាយ យេភុយ្យេន ខាយិតាយ សន្តិកេ អានេត្វា



ដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិថុល្លច្ច័យ ។ បេ ។ (បើភិក្ខុ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។

[៦៦] ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១រូប) មកកាន់សំណាក់មនុស្សស្រី (ម្នាក់) ហើយបញ្ចូលទ្វារវច្ចមគ្គ ឬទ្វារបស្សាវមគ្គ ឬទ្វារមុខមគ្គ (របស់ស្រីនោះ) ឲ្យចូលទៅដោយអង្គជាត (របស់ភិក្ខុនោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។ (បើភិក្ខុ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១រូប) មកកាន់សំណាក់មនុស្សស្រី (ម្នាក់) ដែលនៅភ្ញាក់ដឹងខ្លួនក្តី ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលភ្លេចស្មារតីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីដោយច្រើនក្តី ។ បេ ។ ត្រូវអាបត្តិបារាជិក ។ បេ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១រូប) មកកាន់សំណាក់មនុស្សស្រីដែលស្លាប់ហើយសត្វស៊ីហើយដោយច្រើន (នៅសល់បន្តិចបន្តួច) ហើយញុំាងទ្វារ

អង្គជាតេន វច្ចមគ្គំ បស្សាវមគ្គំ មុខំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ ថុល្លច្ចយស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា ភិក្ខុំ អមនុស្សិត្ថិយា ។ បេ ។ តិរច្ឆានគតិត្ថិយា មនុស្សឧភតោព្យញ្ជនកស្ស អមនុស្សឧភតោព្យញ្ជនកស្ស តិរច្ឆានគតឧភតោព្យញ្ជនកស្ស មនុស្សបណ្ឌកស្ស អមនុស្សបណ្ឌកស្ស តិរច្ឆានគតបណ្ឌកស្ស មនុស្សបុរិសស្ស អមនុស្សបុរិសស្ស តិរច្ឆានគតបុរិសស្ស សន្តិកេ អានេត្វា អង្គជាតេន វច្ចមគ្គំ មុខំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា ភិក្ខុំ តិរច្ឆានគតបុរិសស្ស ជាគរន្តស្ស សុត្តស្ស មត្តស្ស ឧម្មត្តស្ស បមត្តស្ស មតស្ស អក្ខាយិតស្ស មតស្ស



វច្ចមគ្គ ឬទ្វារបស្សាវមគ្គ ឬទ្វារមុខមគ្គ (របស់ស្រីនោះ) ឲ្យចូលទៅដោយអង្គជាត (របស់ភិក្ខុនោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិថុល្លច្ច័យ ។ បេ ។ (បើភិក្ខុ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១រូប) មកកាន់សំណាក់អមនុស្សស្រី ។ បេ ។ តិរច្ឆានញី មនុស្សមានភេទពីរ អមនុស្សមានភេទពីរ តិរច្ឆានមានភេទពីរ មនុស្សខ្ទើយ អមនុស្សខ្ទើយ តិរច្ឆានខ្ទើយ មនុស្សប្រុស អមនុស្សប្រុស តិរច្ឆានឈ្មោល ហើយញាំងទ្វារវច្ចមគ្គ ឬទ្វារមុខមគ្គ (របស់ជនទាំងនោះ) ឲ្យចូលទៅដោយអង្គជាត (របស់ភិក្ខុនោះ) ។ បើភិក្ខុនោះ ត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។ (បើភិក្ខុ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១រូប) មកកាន់សំណាក់តិរច្ឆានឈ្មោល ដែលនៅភ្ញាក់រឭកក្តី ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលភ្លេចស្មារតីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីក្តី ដែលស្លាប់

យេភុយ្យេន អក្ខាយិតស្ស ។ បេ ។ អាបត្តិ បារាជិកស្ស ។ បេ ។ មតស្ស យេភុយ្យេន ខាយិតស្ស សន្តិកេ អានេត្វា អង្គជាតេន វច្ចមគ្គំ មុខំ អភិនិសីទេន្តិ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ ថុល្លច្ចយស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។

(៦៣) ភិក្ខុប្បច្ចត្ថិកា ភិក្ខុំ មនុស្សិត្ថិយា សន្តិកេ អានេត្វា អង្គជាតេន វច្ចមគ្គំ បស្សាវមគ្គំ មុខំ អភិនិសីទេន្តិ សន្ថតស្ស អសន្ថតាយ អសន្ថតស្ស សន្ថតាយ សន្ថតស្ស សន្ថតាយ



ហើយសត្វមិនទាន់ស៊ីដោយច្រើនក្តី ។ បេ ។ ត្រូវអាបត្តិបារាជិក ។ បេ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១រូប) មកកាន់សំណាក់តិរច្ឆានឈ្មោល ដែលស្លាប់ហើយ សត្វស៊ីហើយដោយច្រើន (នៅសល់បន្តិចបន្តួច) ហើយញុំាងទ្វារវច្ចមគ្គ ឬទ្វារមុខមគ្គ (របស់តិរច្ឆានឈ្មោលនោះ) ឲ្យចូលទៅដោយអង្គជាត (របស់ភិក្ខុនោះ) ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ទយចេញក្តី ត្រូវអាបត្តិថុល្លច្ច័យ ។ បេ ។ (បើភិក្ខុ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។

(៦៣) ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១ រូប) មកកាន់សំណាក់មនុស្សស្រី (ម្នាក់) ហើយញុំាងទ្វារវច្ចមគ្គ ឬទ្វារបស្សាវមគ្គ ឬទ្វារមុខមគ្គ (របស់ស្រីនោះ) ដែលគ្មានស្រោមទ្រនាប់ ឲ្យចូលទៅដោយអង្គជាត (របស់ភិក្ខុនោះ) ដែលមានស្រោមទ្រនាប់ក្តី ទ្វារមគ្គរបស់ស្រីដែលមានស្រោមទ្រនាប់ អង្គជាត (របស់ភិក្ខុ) ដែលគ្មានស្រោមទ្រនាប់ក្តី ទ្វារមគ្គ (របស់ស្រី) មានស្រោមទ្រនាប់ អង្គជាត (របស់ភិក្ខុ) មានស្រោមទ្រនាប់

អសន្ថតស្ស អសន្ថតាយ ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា ភិក្ខុំ មនុស្សិត្ថិយា ជាគរន្តិយា សុត្តាយ មត្តាយ ឧម្មត្តាយ បមត្តាយ មតាយ អក្ខាយិតាយ មតាយ យេភុយ្យេន អក្ខាយិតាយ ។ បេ ។ អាបត្តិ បារាជិកស្ស ។ បេ ។ មតាយ យេភុយ្យេន ខាយិតាយ សន្តិកេ អានេត្វា អង្គជាតេន វច្ចមគ្គំ បស្សាវមគ្គំ មុខំ អភិនិសីទេន្តិ សន្ថតស្ស អសន្ថតាយ អសន្ថតស្ស សន្ថតាយ សន្ថតស្ស សន្ថតាយ អសន្ថតស្ស អសន្ថតាយ ។ សោ ចេ



ក្តី ទ្វារមគ្គ(របស់ស្រី) គ្មានស្រោមខ្ទាប់ អង្គជាត(របស់ភិក្ខុ) គ្មានស្រោមខ្ទាប់ក្តី ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ(ក្នុងទ្វារមគ្គនោះ)ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។ (បើភិក្ខុ)មិនត្រេកអរទេ គឺមិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១ រូប) មកកាន់សំណាក់មនុស្សស្រី (ម្នាក់) ដែលនៅភ្ញាក់ដឹងខ្លួនក្តី ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលភ្លេចស្មារតីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីដោយច្រើនក្តី ។ បេ ។ ត្រូវអាបត្តិបារាជិក ។ បេ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១ រូប) មកកាន់សំណាក់មនុស្សស្រីដែលស្លាប់ហើយសត្វស៊ីហើយដោយច្រើន (នៅសល់បន្តិចបន្តួច) ហើយញុំាងទ្វារវច្ចមគ្គ ឬទ្វារបស្សាវមគ្គ ឬទ្វារមុខមគ្គ (របស់ស្រីនោះ)ដែលគ្មានស្រោមខ្ទាប់ ឲ្យចូលទៅដោយអង្គជាត(របស់ភិក្ខុ)ដែលមានស្រោមខ្ទាប់ក្តី ទ្វារមគ្គ (របស់ស្រី) មានស្រោមខ្ទាប់ អង្គជាត(របស់ភិក្ខុ) គ្មានស្រោមខ្ទាប់ក្តី ទ្វារមគ្គ (របស់ស្រី)មានស្រោមខ្ទាប់ អង្គជាត(របស់ភិក្ខុ)មានស្រោមខ្ទាប់ក្តី ទ្វារមគ្គ(របស់ស្រី) គ្មានស្រោមខ្ទាប់ អង្គជាត(របស់ភិក្ខុ)គ្មានស្រោមខ្ទាប់ក្តី ។ បើភិក្ខុនោះត្រេកអរ

បវេសនំ សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សា-
ទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ ថុល្លច្ចយស្ស
។ បេ ។ ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា
ភិក្ខុំ អមនុស្សិត្ថិយា ។ បេ ។ តិរច្ឆានគតិត្ថិយា
មនុស្សឧភតោព្យញ្ជនកស្ស អមនុស្សឧភតោព្យញ្ជន-
កស្ស តិរច្ឆានគតឧភតោព្យញ្ជនកស្ស មនុស្សបណ្ឌ-
កស្ស អមនុស្សបណ្ឌកស្ស តិរច្ឆានគតបណ្ឌកស្ស
មនុស្សបុរិសស្ស អមនុស្សបុរិសស្ស តិរច្ឆានគតបុរិ-
សស្ស សន្តិកេ អានេត្វា អង្គជាតេន វច្ចមគ្គំ
មុខំ អភិនិសីទេន្តិ សន្ថតស្ស អសន្ថតស្ស អ-
សន្ថតស្ស សន្ថតស្ស សន្ថតស្ស សន្ថតស្ស
អសន្ថតស្ស អសន្ថតស្ស ។ សោ ចេ បវេសនំ
សាទិយតិ បវិដ្ឋំ សាទិយតិ ឋិតំ សាទិយតិ
ឧទ្ធរណំ សាទិយតិ អាបត្តិ បារាជិកស្ស ។ បេ ។



នឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅ
ហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ងៀមនៅ (ក្នុងទ្វារមគ្គនោះ)ក្តី
ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិថុល្លច្ច័យ ។ បេ ។ (បើ
ភិក្ខុ)មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ
(១ រូប) មកកាន់សំណាក់អមនុស្សស្រី ។ បេ ។ តិរច្ឆានញី មនុស្សមាន
ភេទពីរ អមនុស្សមានភេទពីរ តិរច្ឆានមានភេទពីរ មនុស្សខ្ទើយ អមនុស្ស
ខ្ទើយ តិរច្ឆានខ្ទើយ មនុស្សប្រុស អមនុស្សប្រុស តិរច្ឆានឈ្មោល ហើយ
ញ៉ាំងទ្វារវច្ចមគ្គ ឬទ្វារមុខមគ្គ (របស់ជនទាំងនោះ) ដែលគ្មានស្រោម
ខ្ទប់ឲ្យចូលទៅដោយអង្គជាត (របស់ភិក្ខុ) ដែលមានស្រោមខ្ទប់ក្តី
ទ្វារមគ្គ (របស់ជនទាំងនោះ) មានស្រោមខ្ទប់ អង្គជាត (របស់ភិក្ខុ)
គ្មានស្រោមខ្ទប់ក្តី ទ្វារមគ្គ (របស់ជនទាំងនោះ) មានស្រោមខ្ទប់
អង្គជាត (របស់ភិក្ខុ) មានស្រោមខ្ទប់ក្តី ទ្វារមគ្គ(របស់ជនទាំងនោះ)គ្មាន
ស្រោមខ្ទប់ អង្គជាត (របស់ភិក្ខុ) គ្មានស្រោមខ្ទប់ក្តី ។ បើភិក្ខុនោះ
ត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូល
ស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ងៀមនៅ (ក្នុងទ្វារមគ្គនោះ)
ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអាបត្តិបារាជិក ។ បេ ។

ន សាទិយតិ អនាបត្តិ ។ ភិក្ខុបច្ចត្ថិកា ភិក្ខុំ តិរច្ឆានគតបុរិសស្ស ជាគរន្តស្ស សុត្តស្ស មត្តស្ស ឧម្មត្តស្ស បមត្តស្ស មតស្ស អក្ខាយិតស្ស មតស្ស យេភុយ្យេន អក្ខាយិតស្ស ។ បេ ។ អាបត្តិ បារា-ជិកស្ស ។ បេ ។ មតស្ស យេភុយ្យេន ខាយិតស្ស សន្តិកេ អានេត្វា អង្គជាតេន វច្ចមគ្គំ មុខំ អភិនិ-សីទេន្តិ សន្ថតស្ស អសន្ថតស្ស អសន្ថតស្ស សន្ថ-តស្ស សន្ថតស្ស សន្ថតស្ស អសន្ថតស្ស អសន្ថ-តស្ស ។ សោ ចេ បវេសនំ សាទិយតិ បវិដ្ឋំ សាទិ-យតិ ឋិតំ សាទិយតិ ឧទ្ធរណំ សាទិយតិ អាបត្តិ ថុល្លច្ចយស្ស ។ បេ ។ ន សាទិយតិ អនាបត្តិ ។



(បើភិក្ខុ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១រូប) មកកាន់សំណាក់តិរច្ឆានឈ្មោល ដែលនៅភ្ញាក់ដឹងខ្លួនក្តី ដែលកំពុងដេកលក់ក្តី ដែលស្រវឹងក្តី ដែលឆ្កួតក្តី ដែលភ្លេចស្មារតីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីក្តី ដែលស្លាប់ហើយសត្វមិនទាន់ស៊ីជាយច្រើនក្តី ។ បេ ។ ត្រូវអាបត្តិបារាជិក ។ បេ ។ ពួកភិក្ខុជាសត្រូវនាំយកភិក្ខុ (១រូប) មកកាន់សំណាក់តិរច្ឆានឈ្មោល ដែលស្លាប់ហើយសត្វស៊ីហើយជាយច្រើន (នៅសល់បន្តិចបន្តួច) ហើយញ៉ាំងទ្វារវច្ចមគ្គឬទ្វារមុខមគ្គ (របស់តិរច្ឆានឈ្មោល) ដែលគ្មានស្រោមទ្រនាប់ ឲ្យចូលទៅដោយអង្គជាត (របស់ភិក្ខុ) មានស្រោមទ្រនាប់ក្តី ទ្វារមគ្គ (របស់តិរច្ឆានឈ្មោល) មានស្រោមទ្រនាប់ អង្គជាត (របស់ភិក្ខុ) គ្មានស្រោមទ្រនាប់ក្តី ទ្វារមគ្គ (របស់តិរច្ឆានឈ្មោល) មានស្រោមទ្រនាប់ អង្គជាត (របស់ភិក្ខុ) មានស្រោមទ្រនាប់ក្តី ទ្វារមគ្គ (របស់តិរច្ឆានឈ្មោល) គ្មានស្រោមទ្រនាប់ អង្គជាត (របស់ភិក្ខុ) គ្មានស្រោមទ្រ-នាប់ក្តី ។ បើភិក្ខុនោះត្រេកអរនឹងអង្គជាតដែលកំពុងចូលទៅក្តី ត្រេកអរនឹងអង្គជាតដែលចូលស៊ប់ទៅហើយក្តី ត្រេកអរនឹងអង្គជាតដែលកំពុងស្ថិតនៅ (ក្នុងទ្វារមគ្គនោះ) ក្តី ត្រេកអរនឹងអង្គជាតដែលបន្ថយចេញក្តី ត្រូវអា-បត្តិថុល្លច្ច័យ ។ បេ ។ (បើភិក្ខុ) មិនត្រេកអរទេ ក៏មិនត្រូវអាបត្តិឡើយ ។

(៦៦) យថា ភិក្ខុបច្ចត្ថិកា វិត្ថារិតា ឯវំ រាជបច្ចត្ថិកា ចោរបច្ចត្ថិកា ធុត្តបច្ចត្ថិកា ឧប្បលគន្ធបច្ចត្ថិកា វិត្ថារេតព្វា ។

(៦៧) មគ្គេន មគ្គំ បវេសេតិ អាបត្តិ បារាជិកស្ស ។ មគ្គេន អមគ្គំ បវេសេតិ អាបត្តិ បារាជិកស្ស ។ អមគ្គេន មគ្គំ បវេសេតិ អាបត្តិ បារាជិកស្ស ។ អមគ្គេន អមគ្គំ បវេសេតិ អាបត្តិ ថុល្លច្ចយស្ស ។

(៦៨) ភិក្ខុ សុត្តភិក្ខុម្ហិ វិប្បដិបជ្ជតិ បដិពុទ្ធោ សាទិយតិ ឧភោ នាសេតព្វា ។ បដិពុទ្ធោ ន សាទិយតិ ទូសកោ នាសេតព្វោ ។ ភិក្ខុ សុត្តសាមណេរម្ហិ វិប្បដិបជ្ជតិ បដិពុទ្ធោ



(៦៦) ពួកភិក្ខុជាសត្រូវដែលបានសំដែងហើយដោយពិស្តារយ៉ាងណា ពួកស្តេចជាសត្រូវក្តី ពួកចោរជាសត្រូវក្តី ពួកអ្នកលេងជាសត្រូវក្តី ពួកសត្រូវអ្នកពុះទ្រូងការយកបេះដូងក្តី បណ្ឌិតគប្បីពោលឲ្យពិស្តារយ៉ាងនោះដែរ ។

(៦៧) ភិក្ខុញ៉ាំងមគ្គឲ្យចូលទៅដោយមគ្គ[១] ត្រូវអាបត្តិបារាជិក ។ ភិក្ខុញ៉ាំងអមគ្គឲ្យចូលទៅដោយមគ្គ[២] ត្រូវអាបត្តិបារាជិក ។ ភិក្ខុញ៉ាំងមគ្គឲ្យចូលទៅដោយអមគ្គ[៣] ត្រូវអាបត្តិបារាជិក ។ ភិក្ខុញ៉ាំងអមគ្គឲ្យចូលទៅដោយអមគ្គ[៤] ត្រូវអាបត្តិថុល្លច្ច័យ ។

(៦៨) ភិក្ខុសេពមេថុនធម្មនឹងភិក្ខុឯទៀតដែលកំពុងដេកលក់ បើភិក្ខុនោះភ្ញាក់ឡើងហើយត្រេកអរដែរ សង្ឃត្រូវឲ្យវិនាស (គឺត្រូវផ្សឹកចេញ) ទាំងពីររូប ។ បើភិក្ខុនោះភ្ញាក់ឡើងហើយមិនត្រេកអរទេ សង្ឃត្រូវឲ្យវិនាសតែភិក្ខុដែលប្រទូស្ត (គឺភិក្ខុអ្នកសេពនោះ) ។ ភិក្ខុសេពមេថុនធម្មនឹងសាមណេរដែលកំពុងដេកលក់ បើសាមណេរនោះភ្ញាក់ឡើង

---

១ គឺភិក្ខុញ៉ាំងអង្គជាតរបស់ខ្លួនឲ្យចូលទៅតាមទ្វារមគ្គទាំង ៣ ទ្វារមគ្គណាមួយ ។ ២ គឺបញ្ចូលអង្គជាតទៅតាមទ្វារមគ្គ ហើយបន្ថយអង្គជាតចេញតាមមុខដំបៅដែលមានជុំវិញទ្វារមគ្គនោះ ។ ៣ គឺបញ្ចូលអង្គជាតទៅតាមមុខដំបៅ ហើយបន្ថយចេញតាមទ្វារមគ្គវិញ ។ ៤ គឺបញ្ចូលអង្គជាតទៅតាមមុខដំបៅមួយ ហើយបន្ថយចេញតាមមុខដំបៅផ្សេងវិញ ។

សាទិយតិ ឧភោ នាសេតព្វា ។ បដិពុទ្ធោ ន សាទិយតិ ទូសកោ នាសេតព្វោ ។ សាមណេរោ សុត្តភិក្ខុម្ហិ វិប្បដិបជ្ជតិ បដិពុទ្ធោ សាទិយតិ ឧភោ នាសេតព្វា ។ បដិពុទ្ធោ ន សាទិយតិ ទូសកោ នាសេតព្វោ ។ សាមណេរោ សុត្តសាមណេរម្ហិ វិប្បដិបជ្ជតិ បដិពុទ្ធោ សាទិយតិ ឧភោ នាសេតព្វា ។ បដិពុទ្ធោ ន សាទិយតិ ទូសកោ នាសេតព្វោ ។

(៤៧) អនាបត្តិ អជានន្តស្ស ឧម្មត្តកស្ស ខិត្តចិត្តស្ស វេទនដ្ដស្ស អាទិកម្មិកស្សាតិ ។

សន្ថតភាណវារំ និដ្ឋិតំ ។

(៤៨) មក្កដី វជ្ជីបុត្តា ច គិហី នគ្គោ ច តិត្ថិយា



ហើយត្រេកអរដែរ សង្ឃត្រូវឲ្យវិនាសទាំងពីររូប ។ បើសាមណេរនោះភ្ញាក់ឡើងហើយមិនត្រេកអរទេ សង្ឃត្រូវឲ្យវិនាសតែភិក្ខុដែលប្រទូស្ត ។ សាមណេរសេពមេថុនធម្មនឹងភិក្ខុដែលកំពុងដេកលក់ បើភិក្ខុនោះភ្ញាក់ឡើងហើយត្រេកអរដែរ សង្ឃត្រូវឲ្យវិនាសទាំងពីររូប ។ បើភិក្ខុនោះភ្ញាក់ឡើងហើយមិនត្រេកអរទេ សង្ឃត្រូវឲ្យវិនាសតែសាមណេរដែលប្រទូស្ត ។ សាមណេរសេពមេថុនធម្មនឹងសាមណេរផងគ្នា ដែលកំពុងដេកលក់ បើសាមណេរនោះភ្ញាក់ឡើងហើយត្រេកអរដែរ សង្ឃត្រូវឲ្យវិនាសទាំងពីររូប ។ បើសាមណេរនោះភ្ញាក់ឡើងហើយមិនត្រេកអរទេ សង្ឃត្រូវឲ្យវិនាសតែសាមណេរដែលប្រទូស្ត ។

(៤៧) អាបត្តិមិនមាន (ដល់ភិក្ខុ ៥ ពួក) គឺ ភិក្ខុមិនដឹង ១ ភិក្ខុឆ្កួត ១ ភិក្ខុមានចិត្តរវើរវាយ ១ ភិក្ខុដែលវេទនាគ្របសង្កត់ ១ អាទិកម្មិក (គឺភិក្ខុដើមបញ្ញត្តិ) ១ ។

របៀបសំដែងអំពីអង្គជាតនិងទ្វារមគ្គមានគ្រឿងទ្រនាប់ ចប់ ។

(៤៨) (មាតិកានុក្រម គឺបញ្ជីរឿងការណ៍ជាប់ហូរហែ ដែលទ្រង់សំដែងទុកដូចមានក្រោមនេះគឺ)

រឿងស្វាញី រឿងពួកវជ្ជីបុត្តភិក្ខុ រឿងភិក្ខុក្លែងភេទជាគ្រ.
ហស្ថ រឿងភិក្ខុអាក្រាត រឿងពួកភិក្ខុប្រព្រឹត្តតាមលទ្ធិតិរ្ថិយ

ឆវិកា ឧប្បលវណ្ណា ច ព្យញ្ជនេហិ បរេ ទុវេ

មាតា ធីតា ភគិនី ច ជាយា ច មុទុលម្ពិនា

ទ្វេ វណា លេបចិត្តញ្ច ទារុធីតលិកាយ ច

សុន្ទរេន សហ បញ្ច បញ្ច សិវថិកដ្ឋិកា

នាគី យក្ខី ច បេតី ច បណ្ឌកោបហតោ ឆុបេ

ភទ្ទិយេ អរហំ សុត្តោ សាវត្ថិយំ ចតុរោ បរេ

វេសាលិយា តយោ មាលា សុបិនោ ភារុកច្ឆកោ

សុបព្វា សទ្ធា ភិក្ខុនី សិក្ខមានា សាមណេរី ច

វេសិយា បណ្ឌកោ គិហី អញ្ញមញ្ញំ វុឌ្ឍបព្វជិតោ

មិគោតិ ។

[៦៩] តេន ខោ បន សមយេន អញ្ញ-តរោ ភិក្ខុ មក្កដិយា មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ភគវតា សិក្ខាបទំ បញ្ញត្តំ



រឿងឆវិកា រឿងឧប្បលវណ្ណាភិក្ខុនី រឿងផនវេព្យញ្ជនៈពីររូប គឺភិក្ខុក្លាយភេទជាស្រី នឹងភិក្ខុនីក្លាយភេទជាបុរស រឿងមាតា រឿងធីតា រឿងប្អូនស្រី រឿងប្រពន្ធ រឿងភិក្ខុខ្នងទន់ រឿងភិក្ខុមានអង្គជាតវែង រឿងស្នាមដំបៅពីរយ៉ាង រឿងរូបគំនូរ រឿងឈើចំឡាក់ជារូបធីតា រឿងភិក្ខុ ៥ រូបទាំងសុន្ទរភិក្ខុផង រឿងភិក្ខុ ៥ រូបនៅក្នុងព្រៃខ្មោច រឿងនាគញី រឿងយក្ខិនី រឿងស្រីប្រេត រឿងភិក្ខុខ្ទើយ រឿងភិក្ខុកើតរោគស្ពឹក រឿងភិក្ខុចាប់មាតុគ្រាមប្រុងនឹងសេព រឿងភិក្ខុដេកលក់ក្នុងទីសម្រាកថ្ងៃក្រុងភទ្ទិយ រឿងភិក្ខុរាំងខ្លាយ ៤ រូបឯទៀតក្នុងក្រុងសាវត្ថី រឿងអ្នកចំបាប់ ៣ នាក់ក្នុងក្រុងវេសាលី រឿងភារុកច្ឆកភិក្ខុយល់សុបិននិមិត្ត រឿងនាងសុបព្វា រឿងនាងសទ្ធា រឿងភិក្ខុនី រឿងសិក្ខមានា រឿងសាមណេរី រឿងស្រីផ្កាមាស រឿងមនុស្សខ្ទើយ រឿងគ្រហស្ថ រឿងភិក្ខុសេពគ្នានឹងគ្នា រឿងភិក្ខុបួសឯចាស់ រឿងសត្វម្រឹគ ។

(៦៩) សម័យនោះឯង ភិក្ខុ ១ រូបបានសេពមេថុនធម្មនឹងស្វាញី ។ ភិក្ខុនោះក៏មានសេចក្ដីសង្ស័យថា សិក្ខាបទព្រះដ៏មានព្រះភាគទ្រង់បញ្ញត្ត

កច្ចិ នុ ខោ អហំ បារាជិកំ អាបត្តឹ អាបន្នោតិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៨០) តេន ខោ បន សមយេន សម្ពហុលា វេសាលិកា វជ្ជីបុត្តកា ភិក្ខូ សិក្ខំ អប្បច្ចក្ខាយ ទុព្ពល្យំ អនាវិកត្វា មេថុនំ ធម្មំ បដិសេវឹសុ ។ តេសំ កុក្កុច្ចំ អហោសិ ភគវតា សិក្ខាបទំ បញ្ញត្តំ កច្ចិ នុ ខោ មយំ បារាជិកំ អាបត្តឹ អាបន្នាតិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អាបត្តឹ តុម្ហេ ភិក្ខវេ អាបន្នា បារាជិកន្តិ ។

(៨១) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ឯវំ មេ អនាបត្តិ ភវិស្សតីតិ គិហិលិង្គេន មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៨២) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ឯវំ មេ អនាបត្តិ ភវិស្សតីតិ នគ្គោ ហុត្វា មេថុនំ ធម្មំ បដិសេវិ ។



ហើយ អញប្រហែលជាត្រូវអាបត្តិបារាជិកហើយឬទេ ។ ទើបភិក្ខុនោះក្រាបបង្គំទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៨០) សម័យនោះឯង ពួកវជ្ជីបុត្តកភិក្ខុច្រើនរូបនៅក្នុងក្រុងវេសាលី មិនបានលាសិក្ខា មិនបានធ្វើឲ្យជាក់ច្បាស់ជាខ្លួនមានកម្លាំងថយ ហើយសេពមេថុនធម្ម ។ ភិក្ខុទាំងអម្បាលនោះ មានសេចក្តីសង្ស័យថា សិក្ខាបទព្រះដ៏មានព្រះភាគទ្រង់បញ្ញត្តហើយ យើងរាល់គ្នាប្រហែលជាត្រូវអាបត្តិបារាជិកហើយឬទេ ។ ភិក្ខុទាំងនោះ ក៏ក្រាបបង្គំទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អ្នកឯងទាំងអស់គ្នាត្រូវអាបត្តិបារាជិកហើយ ។

(៨១) សម័យនោះឯង ភិក្ខុ ១ រូបក្លែងខ្លួនជាគ្រហស្ថ ហើយសេពមេថុនធម្មដោយគិតថា កាលបើអញធ្វើយ៉ាងនេះ អញនឹងមិនត្រូវអាបត្តិឡើយ ។ ភិក្ខុនោះក៏មានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៨២) សម័យនោះឯង ភិក្ខុ ១ រូប ធ្វើជាអ្នកអាក្រាត ហើយសេពមេថុនធម្ម ដោយគិតថា កាលបើអញធ្វើយ៉ាងនេះ អញនឹងមិន

តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៨៣) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ឯវំ មេ អនាបត្តិ ភវិស្សតីតិ កុសចីរំ និវាសេត្វា ។ បេ ។ វាកចីរំ និវាសេត្វា ផលកចីរំ និវាសេត្វា កេសកម្ពលំ និវាសេត្វា វាលកម្ពលំ និវាសេត្វា ឧលូកបក្ខំ និវាសេត្វា អជិនក្ខិបំ និវាសេត្វា មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៨៤) តេន ខោ បន សមយេន អញ្ញតរោ បិណ្ឌចារិកោ ភិក្ខុ បីឋកេ និបន្នំ ទារិកំ បស្សិត្វា សារត្តោ អង្គុដ្ឋំ អង្គជាតំ បវេសេសិ ។ សា កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ សង្ឃាទិសេសស្សាតិ ។



ត្រូវអាបត្តិហើយ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៨៣) សម័យនោះឯង ភិក្ខុ ១ រូប ស្លៀកស្បូវក្រែង ។ បេ ។ ស្លៀកសម្ពត់សំបកឈើ ស្លៀកសម្ពត់ដែលត្បាញជារូបផ្ទៃឈើ ស្លៀកសម្ពត់ដែលត្បាញដោយសក់ ស្លៀកសម្ពត់ដែលត្បាញដោយរោមកន្ទុយសត្វ ស្លៀកសម្ពត់ដែលត្បាញដោយស្លាបមៀម ស្លៀកស្បែកខ្លាដែលនៅមានទាំងរោមទាំងក្រចក ហើយសេពមេថុនធម្ម ដោយគិតថា កាលបើអញធ្វើយ៉ាងនេះ អញនឹងមិនត្រូវអាបត្តិឡើយ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៨៤) សម័យនោះឯង ភិក្ខុ ១ រូបជាអ្នកប្រព្រឹត្តបិណ្ឌបាត - បានឃើញនាងទារិកាម្នាក់ដេកនៅលើតាំង ក៏មានចិត្តត្រេកអរ ហើយយកមេដៃ (ខ្លួន) ទៅស្រេបញ្ចូលចំអង្គជាតនាងទារិកានោះ ។ នាងក៏ធ្វើមរណកាលទៅ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះសម្ពុទ្ធជាម្ចាស់ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិសង្ឃាទិសេស ។

[៨៤] តេន ខោ បន សមយេន អញ្ញតរោ មាណវកោ ឧប្បលវណ្ណាយ ភិក្ខុនិយា បដិពទ្ធចិត្តោ ហោតិ ។ អថខោ សោ មាណវកោ ឧប្បលវណ្ណាយ ភិក្ខុនិយា គាមំ បិណ្ឌាយ បវិដ្ឋាយ កុដឹ បវិសិត្វា និលីនោ អច្ឆិ ។ ឧប្បលវណ្ណា ភិក្ខុនី បច្ឆាភត្តំ បិណ្ឌបាតប្បដិក្កន្តា បាទេ បក្ខាលេត្វា កុដឹ បវិសិត្វា មញ្ចកេ និសីទិ ។ អថខោ សោ មាណវកោ ឧប្បលវណ្ណំ ភិក្ខុនឹ ឧគ្គហេត្វា ទូសេសិ ។ ឧប្បលវណ្ណា ភិក្ខុនី ភិក្ខុនីនំ ឯតមត្ថំ អារោចេសិ ។ ភិក្ខុនិយោ ភិក្ខូនំ ឯតមត្ថំ អារោចេសុំ ។ ភិក្ខូ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អនាបត្តិ ភិក្ខវេ អសាទិយន្តិយាតិ ។

[៨៥] តេន ខោ បន សមយេន អញ្ញតរស្ស ភិក្ខុនោ ឥត្ថីលិង្គំ បាតុភូតំ ហោតិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អនុជានាមិ ភិក្ខវេ តំយេវ ឧបជ្ឈំ តមេវ ឧបសម្បទំ តានិ វស្សានិ ភិក្ខុនីហិ សង្កមិតុំ



(៨៤) សម័យនោះឯង មាណពម្នាក់មានសេចក្ដីប្រតិព័ទ្ធចាប់ចិត្ត នឹងឧប្បលវណ្ណាភិក្ខុនី ។ កាលដែលឧប្បលវណ្ណាភិក្ខុនីចូលទៅបិណ្ឌបាតក្នុងស្រុក មាណពនោះក៏ចូលទៅពួននៅក្នុងកុដិគួចបាំ ។ លុះដល់ឧប្បលវណ្ណាភិក្ខុនីត្រឡប់មកពីបិណ្ឌបាតវិញ ឆាន់រួចហើយ ក៏លាងជើង ហើយចូលទៅកាន់កុដិ អង្គុយនៅលើគ្រែ ។ ខណៈនោះ មាណពនោះ ក៏ស្ទុះចាប់ស្រឡិតឧប្បលវណ្ណាភិក្ខុនី ហើយប្រទូស្ដ ។ ឧប្បលវណ្ណា-ភិក្ខុនីក៏ប្រាប់សេចក្ដីនុះដល់ពួកភិក្ខុនីផងគ្នា ។ ភិក្ខុនីទាំងឡាយក៏ប្រាប់សេចក្ដីនុះ ដល់ភិក្ខុទាំងឡាយ ។ ភិក្ខុទាំងឡាយក៏នាំសេចក្ដីនុះទៅក្រាបបង្គំទូលចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ ឧប្បលវណ្ណាមិនត្រូវអាបត្តិទេ ព្រោះមិនមានសេចក្ដីត្រេកត្រអាលឡើយ ។

(៨៥) សម័យនោះឯង ភិក្ខុ ១ រូប ក្លាយភេទខ្លួនប្រែទៅជាស្រី ។ ភិក្ខុទាំងឡាយក្រាបបង្គំទូលសេចក្ដីនុះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ តថាគតអនុញ្ញាតឱ្យ ឧបជ្ឈាយ៍នោះដដែល នឹងឧបសម្បទានោះដដែល នឹងវស្សាទាំងនោះ(១)

---

១ ពុំត្រូវសំអនុញ្ញាតអោយចាប់ឧបជ្ឈាយ៍ និងឧបសម្បទាថ្មីទៀត វស្សាក៏មិនចាប់ផ្ដើមរាប់ជាថ្មីទៀត រាប់តាំងពីឧបសម្បទានោះមកដដែល ។

យា អាបត្តិយោ ភិក្ខូនំ ភិក្ខុនីហិ សាធារណា តា អាបត្តិយោ ភិក្ខុនីនំ សន្តិកេ វុដ្ឋាតុំ យា អាបត្តិយោ ភិក្ខូនំ ភិក្ខុនីហិ អសាធារណា តាហិ អាបត្តីហិ អនាបត្តីតិ ។ តេន ខោ បន សម-យេន អញ្ញតរិស្សា ភិក្ខុនិយា បុរិសលិង្គំ បាតុភូតំ ហោតិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អនុ-ជានាមិ ភិក្ខវេ តំយេវ ឧបជ្ឈំ តមេវ ឧបសម្បទំ តានិ វស្សានិ ភិក្ខូហិ សង្គមិតុំ យា អាបត្តិយោ ភិក្ខុនីនំ ភិក្ខូហិ សាធារណា តា អាបត្តិយោ ភិក្ខូនំ សន្តិកេ វុដ្ឋាតុំ យា អាបត្តិយោ ភិក្ខុនីនំ ភិក្ខូហិ អសាធារណា តាហិ អាបត្តីហិ អនាបត្តីតិ ។

(៥៧) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ឯវំ មេ អនាបត្តិ ភវិស្សតីតិ មាតុយា មេថុនំ ធម្មំ បដិសេវិ ។ បេ ។ ធីតុយា មេថុនំ ធម្មំ បដិសេវិ ។ បេ ។



នឹងអនុញ្ញាតឲ្យនៅរួមជាមួយនឹងភិក្ខុនីទាំងឡាយ (មួយទៀត) អាបត្តិណាជារបស់ភិក្ខុដែលទូទៅដល់ភិក្ខុនីទាំងឡាយ តថាគតអនុញ្ញាតឲ្យអាបត្តិទាំងនោះ ដើម្បីឲ្យភិក្ខុដែលក្លាយភេទជាស្រីនោះចេញក្នុងសំណាក់ភិក្ខុនីទាំងឡាយបាន អាបត្តិណាជារបស់ភិក្ខុដែលមិនទូទៅដល់ភិក្ខុនីទាំងឡាយ ភិក្ខុនីនោះមិនត្រូវអាបត្តិព្រោះអាបត្តិនោះឡើយ ។ សម័យនោះឯង ភិក្ខុនី ១ រូប ក្លាយភេទខ្លួនទៅជាប្រុស ។ ភិក្ខុទាំងឡាយក្រាបបង្គំទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ តថាគតអនុញ្ញាតឲ្យឧបជ្ឈាយ៍នោះដដែល នឹងឧបសម្បទានោះដដែល នឹងវស្សាទាំងនោះ នឹងអនុញ្ញាតឲ្យនៅរួមជាមួយនឹងភិក្ខុទាំងឡាយ អាបត្តិណាជារបស់ភិក្ខុនីដែលទូទៅដល់ភិក្ខុទាំងឡាយ តថាគតអនុញ្ញាតឲ្យអាបត្តិទាំងនោះ ដើម្បីឲ្យភិក្ខុនីដែលក្លាយភេទខ្លួនជាប្រុសនោះចេញក្នុងសំណាក់ភិក្ខុទាំងឡាយបាន អាបត្តិណាជារបស់ភិក្ខុនីដែលមិនទូទៅដល់ភិក្ខុទាំងឡាយទេ (ភិក្ខុនោះ) មិនមានអាបត្តិព្រោះអាបត្តិទាំងនោះឡើយ ។

(៥៧) សម័យនោះឯង ភិក្ខុ ១ រូប សេពមេថុនធម្មនឹងមាតា (របស់ខ្លួន) ដោយយល់ថា កាលបើអញធ្វើយ៉ាងនេះ អញនឹងមិនត្រូវអាបត្តិឡើយ ។ បេ ។ សេពមេថុនធម្មនឹងធីតា (របស់ខ្លួន) ។ បេ ។

ភគិនិយា មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ បុរាណទុតិយិកាយ មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

[៥៨] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ មុទុបិដ្ឋិកោ ហោតិ ។ សោ អនភិរតិយា បីឡិតោ អត្តនោ អង្គជាតំ មុខេន អគ្គហេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ លម្ពី ហោតិ ។ សោ អនភិរតិយា បីឡិតោ អត្តនោ អង្គជាតំ អត្តនោ វច្ចមគ្គំ បវេសេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។



សេពមេថុនធម្មនឹងប្អូនស្រី (របស់ខ្លួន) ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ទើបក្រាបបង្គំទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង ភិក្ខុ ១ រូប សេពមេថុនធម្មនឹងស្រីដែលមាតាបិតាផ្សំផ្គុំឲ្យអំពីមុន ។ ភិក្ខុនោះក៏មានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៥៨) សម័យនោះឯង ភិក្ខុ ១ រូប មានខ្នងទន់ ។ ភិក្ខុនោះមានសេចក្តីអផ្សុកបៀតបៀន ហើយបានយកអង្គជាតខ្លួនមកបៀមនឹងមាត់ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង ភិក្ខុ ១ រូប មានអង្គជាតវែង ។ ភិក្ខុនោះមានសេចក្តីអផ្សុកបៀតបៀន ក៏ចាប់បំពត់អង្គជាតខ្លួនបញ្ចូលទៅក្នុងវច្ចមគ្គ (គឺទ្វារធំ) របស់ខ្លួន ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៥៩) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ មតសរីរំ បស្សិ ។ តស្មឹ ច សរីរេ អង្គជាតសាមន្តា វណោ ហោតិ ។ សោ ឯវំ មេ អនាបត្តិ ភវិស្សតីតិ អង្គជាតេ អង្គជាតំ បវេសេត្វា វណេន នីហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ មតសរីរំ បស្សិ ។ តស្មឹ ច សរីរេ អង្គជាតសាមន្តា វណោ ហោតិ ។ សោ ឯវំ មេ អនាបត្តិ ភវិស្សតីតិ វណេ អង្គជាតំ បវេសេត្វា អង្គជាតេន នីហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៦០) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សារត្តោ លេបចិត្តស្ស និមិត្តំ អង្គជាតេន ឆុបិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សារត្តោ ទារុធីតលិកាយ និមិត្តំ អង្គជាតេន ឆុបិ ។



(៥៩) សម័យនោះឯង ភិក្ខុ ១ រូបឃើញសរីរមនុស្សស្លាប់ ។ ឯសរីរនោះ មានដំបៅជុំវិញអង្គជាត ។ ភិក្ខុនោះបានបញ្ចូលអង្គជាត (ខ្លួន) ទៅក្នុងអង្គជាត (សរីរនោះ) ហើយបន្ទោរអង្គជាតចេញមកវិញតាមដំបៅ ដោយគិតថា កាលបើអញធ្វើយ៉ាងនេះ អញនឹងមិនត្រូវអាបត្តិឡើយ ។ ភិក្ខុនោះក៏មានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង ភិក្ខុ ១ រូបឃើញសរីរមនុស្សស្លាប់ ។ ឯសរីរនោះមានដំបៅជុំវិញអង្គជាត ។ ភិក្ខុនោះបានបញ្ចូលអង្គជាត (ខ្លួន) ទៅក្នុងដំបៅ ហើយបន្ទោរចេញមកវិញតាមអង្គជាត ដោយគិតថា កាលបើអញធ្វើយ៉ាងនេះ អញនឹងមិនត្រូវអាបត្តិឡើយ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៦០) សម័យនោះឯង ភិក្ខុ ១ រូបមានតម្រេក ហើយយកអង្គជាត (ខ្លួន) ទៅញាល់ទីនិមិត្តរបស់រូបគំនូរ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិទុក្កដ ។ សម័យនោះឯង ភិក្ខុ ១ រូបមានតម្រេក ហើយយកអង្គជាត (ខ្លួន) ទៅញាល់ទីនិមិត្តរបស់រូបតុក្កតាដែលធ្វើដោយឈើ ។

តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។

(៦១) តេន ខោ បន សមយេន សុន្ទរោ នាម ភិក្ខុ រាជគហា បព្វជិតោ រថិកាយ គច្ឆតិ ។ អញ្ញតរា ឥត្ថី តំ បស្សិត្វា ឯតទវោច[1] មុហុត្តំ ភន្តេ វន្ទិស្សាមីតិ ។ សា វន្ទិត្វា អន្តរវាសកំ ឧក្ខិបិត្វា មុខេន អង្គជាតំ អគ្គហេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ សាទិយិ ត្វំ ភិក្ខូតិ ។ នាហំ ភគវា សាទិយិន្តិ ។ អនាបត្តិ ភិក្ខុ អសាទិយន្តស្សាតិ ។

(៦២) តេន ខោ បន សមយេន អញ្ញតរា ឥត្ថី ភិក្ខុំ បស្សិត្វា ឯតទវោច ឯហិ ភន្តេ មេថុនំ ធម្មំ បដិសេវាតិ ។ អលំ ភគិនិ នេតំ កប្បតីតិ ។ ឯហិ ភន្តេ អហំ វាយមិស្សាមិ ត្វំ មា វាយមិ ឯវន្តេ អនាបត្តិ ភវិស្សតីតិ ។ សោ ភិក្ខុ តថា អកាសិ ។

១ តំ បស្សិត្វា ឯតទវោចាតិ ឥទំ មរម្មបោត្ថកេសុ ន ទិស្សតិ ។



ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិទុក្កដ ។

(៦១) សម័យនោះឯង ភិក្ខុ ១ រូបឈ្មោះសុន្ទរៈ ចេញពីក្រុងរាជគ្រឹះទៅបួស ហើយដើរទៅតាមថ្នល់ ។ មានស្ត្រីម្នាក់បានឃើញភិក្ខុនោះ ហើយក៏និយាយថា បពិត្រលោកម្ចាស់ សូមលោកម្ចាស់បង្អង់ ១ ភ្លែត ខ្ញុំព្រះករុណានឹងថ្វាយបង្គំ ។ ស្ត្រីនោះកាលដែលថ្វាយបង្គំ ក៏សើយស្បង់ឡើង ហើយយកមាត់ទៅបៀមអង្គជាត (របស់ភិក្ខុនោះ) ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងត្រេកអរដែរឬទេ ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមិនត្រេកអរទេ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិទេ ព្រោះមិនត្រេកអរ ។

(៦២) សម័យនោះឯង មានស្ត្រីម្នាក់ បានឃើញភិក្ខុ ១ រូបហើយនិយាយថា បពិត្រលោកម្ចាស់ សូមនិមន្តលោកម្ចាស់មកសេពមេថុនធម្ម ។ ភិក្ខុនោះនិយាយថា កុំឡើយ ការសេពមេថុនធម្មនេះមិនគួរទេ ។ ស្ត្រីនោះអង្វរថា បពិត្រលោកម្ចាស់ សូមលោកម្ចាស់និមន្តមក (កុំប្រកែក) ខ្ញុំព្រះករុណានឹងព្យាយាម លោកម្ចាស់មិនបាច់ព្យាយាមទេ (នៅតែស្ងៀមបានហើយ) សេចក្តីយ៉ាងនេះ លោកម្ចាស់មិនត្រូវអាបត្តិទេ ។ ភិក្ខុនោះក៏បានធ្វើតាមពាក្យស្ត្រីនោះ ។

តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរា ឥត្ថី ភិក្ខុំ បស្សិត្វា ឯតទវោច ឯហិ ភន្តេ មេថុនំ ធម្មំ បដិសេវាហីតិ ។ អលំ ភគិនិ នេតំ កប្បតីតិ ។ ឯហិ ភន្តេ ត្វំ វាយមាហិ អហំ ន វាយមិស្សាមិ ឯវន្តេ អនាបត្តិ ភវិស្សតីតិ ។ សោ ភិក្ខុ តថា អកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរា ឥត្ថី ភិក្ខុំ បស្សិត្វា ឯតទវោច ឯហិ ភន្តេ មេថុនំ ធម្មំ បដិសេវាហីតិ ។ អលំ ភគិនិ នេតំ កប្បតីតិ ។ ឯហិ ភន្តេ អជ្ឈត្តំ វាយមិត្វា ពហិទ្ធា មោចេហិ ។ បេ ។ ពហិទ្ធា វាយមិត្វា អជ្ឈត្តំ មោចេហិ ឯវន្តេ អនាបត្តិ ភវិស្សតីតិ ។



ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានស្រីម្នាក់មាននាមមិនប្រាកដ ឃើញភិក្ខុ ១ រូប ហើយនិយាយថា បពិត្រលោកម្ចាស់ សូមនិមន្តលោកមកសេពមេថុនធម្ម (នឹងខ្ញុំសិន) ។ ភិក្ខុនោះឆ្លើយថា កុំនាង អំពើនេះមិនគួរទេ ។ ស្រីនោះក៏និយាយអង្វរថា បពិត្រលោកម្ចាស់ សូមនិមន្តមក សូមលោកម្ចាស់ព្យាយាមចុះ ខ្ញុំព្រះករុណាមិនព្យាយាមទេ ធ្វើយ៉ាងនេះ លោកម្ចាស់មិនត្រូវអាបត្តិឡើយ ។ ភិក្ខុនោះក៏បានធ្វើតាមពាក្យស្រីនោះទៅ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានស្រីម្នាក់ បានឃើញភិក្ខុ ១ រូប ក៏និយាយបបួលថា បពិត្រលោកម្ចាស់ សូមនិមន្តមកសេពមេថុនធម្ម (នឹងខ្ញុំព្រះករុណាឯនេះ) ។ ភិក្ខុនោះឆ្លើយថា កុំប្អូនស្រី អំពើនេះមិនគួរទេ ។ ស្រីនោះក៏តទល់ថា បពិត្រលោកម្ចាស់ សូមលោកនិមន្តមកព្យាយាមក្នុងអង្គជាតខ្ញុំ រួចបញ្ចេញអសុចិទៅខាងក្រៅអង្គជាតវិញ ។ បេ ។ ព្យាយាមខាងក្រៅអង្គជាត ហើយបញ្ចេញអសុចិទៅខាងក្នុងអង្គជាតវិញ ធ្វើយ៉ាងនេះ

សោ ភិក្ខុ តថា អកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៦៣) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សីវថិកំ គន្ត្វា អក្ខាយិតំ(១) សរីរំ បស្សិត្វា តស្មឹ មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សីវថិកំ គន្ត្វា យេភុយ្យេន អក្ខាយិតំ សរីរំ បស្សិត្វា តស្មឹ មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សីវថិកំ គន្ត្វា យេភុយ្យេន ខាយិតំ(២) សរីរំ បស្សិត្វា តស្មឹ មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សីវថិកំ គន្ត្វា ឆិន្នសីសំ បស្សិត្វា

១ ឱ. ម. អក្ខុយិតំ ។ ២ ឱ. ម. ខាយិតំ ។



លោកម្ចាស់មិនត្រូវអាបត្តិឡើយ ។ ភិក្ខុនោះក៏ធ្វើតាមពាក្យស្រីនោះទៅ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៦៣) សម័យនោះឯង មានភិក្ខុ ១ រូប ចូលទៅកាន់ព្រៃខ្មោច ឃើញសរីរខ្មោចដែលសត្វមិនទាន់ស៊ី ហើយសេពមេថុនធម្មក្នុងសរីរខ្មោចនោះ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានភិក្ខុ ១ រូបចូលទៅកាន់ព្រៃខ្មោច ឃើញសរីរខ្មោចដែលសត្វមិនទាន់ស៊ីច្រើនអន្លើប៉ុន្មាន ហើយសេពមេថុនធម្មក្នុងសរីរខ្មោចនោះ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង ភិក្ខុ ១ រូបចូលទៅកាន់ព្រៃខ្មោច ឃើញសរីរខ្មោចដែលសត្វស៊ីច្រើនអន្លើ ហើយសេពមេថុនធម្មក្នុងសរីរខ្មោចនោះ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង មានភិក្ខុ ១ រូបទៅកាន់ព្រៃខ្មោច ឃើញក្បាលខ្មោចដាច់

វដ្ដកាតេ(១) មុខេ ឆុបន្តំ អង្គជាតំ បវេសេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សីវថិកំ គន្ត្វា ឆិន្នសីសំ បស្សិត្វា វដ្ដកតេ មុខេ អច្ឆុបន្តំ អង្គជាតំ បវេសេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អញ្ញតរិស្សា ឥត្ថិយា បដិពទ្ធចិត្តោ ហោតិ ។ សា កាលកតា(២) សុសានេ ឆឌ្ឌិតា(៣) ។ អដ្ឋិកានិ វិប្បកិណ្ណានិ ហោន្តិ ។ អថខោ សោ ភិក្ខុ សីវថិកំ គន្ត្វា អដ្ឋិកានិ សង្កឌ្ឍិត្វា និមិត្តេ អង្គជាតំ បដិបាទេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។

១ ឱ. ម. វដ្ដកតេ ។ ២ ឱ. ម. ក. កាលង្កតា ។ ៣ ឱ. ម. ឆឌ្ឌិតំ ។



ក៏បញ្ចូលអង្គជាត (ខ្លួន) ឲ្យចូលទៅក្នុងមាត់ដែលបើកហា ឲ្យប៉ះទង្គិច (ក្នុងមាត់នោះ) ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង ភិក្ខុ ១ រូបចូលទៅកាន់ព្រៃខ្មោច ឃើញក្បាលខ្មោចដាច់ហើយបញ្ចូលអង្គជាត (ខ្លួន) ទៅក្នុងមាត់ខ្មោចដែលបើកហា មិនឲ្យប៉ះទង្គិច (ក្នុងមាត់នោះ) ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិទុក្កដ ។ សម័យនោះឯង មានភិក្ខុ ១ រូបមានចិត្តប្រតិព័ទ្ធស្រឡាញ់ស្រីម្នាក់ ។ ស្រីនោះធ្វើកាលកិរិយាទៅហើយ គេនាំខ្មោចយកទៅចោលក្នុងព្រៃស្មសាន(១) ។ ឆ្អឹងទាំងឡាយ (នៃខ្មោចស្រីនោះ) ក៏ខ្ចាត់ខ្ចាយរាត់រាយ ។ គ្រានោះ ភិក្ខុនោះទៅកាន់ព្រៃខ្មោច ហើយប្រមូលឆ្អឹងទាំងឡាយយកមកដំរៀប ហើយបញ្ចូលអង្គជាត (ខ្លួន) ទៅក្នុងនិមិត្ត (នៃឆ្អឹងនោះ) ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិទុក្កដ ។

១ ស្មសាន គឺព្រៃសម្រាប់ចោលខ្មោច ជាពាក្យសំស្រ្កឹតឬអានថា ស្មៈសានៈ ដែលអាចក្លាយមកជា សំសាន ។ ពាក្យបាលីថា សុសាន ។

(៦៦) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ នាគិយា មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ យក្ខិនិយា មេថុនំ ធម្មំ បដិសេវិ ។ បេ ។ បេតិយា មេថុនំ ធម្មំ បដិសេវិ ។ បេ ។ បណ្ឌកស្ស មេថុនំ ធម្មំ បដិសេវិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៦៧) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ឧបហតិន្ទ្រិយោ ហោតិ ។ សោ នាហំ វេទិយាមិ សុខំ វា ទុក្ខំ វា អនាបត្តិ[១] មេ ភវិស្សតីតិ មេថុនំ ធម្មំ បដិសេវិ ។ បេ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ វេទិយិ វា សោ ភិក្ខវេ មោឃបុរិសោ ន វា វេទិយិ អាបត្តិ បារាជិកស្សាតិ ។

១ ឱ. ម. សី អនាបត្តិ ។



(៦៦) សម័យនោះឯង មានភិក្ខុ ១ រូប សេពមេថុនធម្មនឹងនាគី (នាគញី) ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះ មានភិក្ខុ ១ រូបសេពមេថុនធម្មនឹងយក្ខិនី ។ បេ ។ សេពមេថុនធម្មនឹងស្រីប្រេត ។ បេ ។ សេពមេថុនធម្មនឹងមនុស្សខ្ទើយ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៦៧) សម័យនោះ មានភិក្ខុ ១ រូប មានឥន្ទ្រិយសាបសូន្យ (គឺមានកេតស្ពឹក) ។ ភិក្ខុនោះក៏សេពមេថុនធម្មដោយគិតថា អញមិនដឹងសេចក្តីសុខទុក្ខ អាបត្តិនឹងមិនមានដល់អញឡើយ ។ បេ ។ ភិក្ខុទាំងឡាយក្រាបបង្គំទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ បុរសសោះសូន្យនោះ ទោះបីដឹង (សេចក្តីសុខទុក្ខ) ក្តី មិនដឹងក្តី ក៏ត្រូវអាបត្តិបារាជិកហើយ ។

អដ្ឋានមេតំ ភិក្ខវេ អនវកាសោ យំ តស្ស ភិក្ខុនោ រាគេន អង្គជាតំ កម្មនិយំ អស្ស អរហំ សោ ភិក្ខវេ ភិក្ខុ អនាបត្តិ ភិក្ខវេ តស្ស ភិក្ខុនោតិ ។

(៦៨) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សាវត្ថិយំ អន្ធវនេ ទិវាវិហារគតោ និបន្នោ ហោតិ ។ អញ្ញតរា គោបាលិកា បស្សិត្វា អង្គជាតេ អភិនិសីទិ ។ សោ ភិក្ខុ បវេសនំ សាទិយិ បវិដ្ឋំ សាទិយិ ឋិតំ សាទិយិ ឧទ្ធរណំ សាទិយិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តិ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សាវត្ថិយំ អន្ធវនេ ទិវាវិហារគតោ និបន្នោ ហោតិ ។ អញ្ញតរា អជបាលិកា បស្សិត្វា ។ បេ ។ អញ្ញតរា កដ្ឋហារិកា បស្សិត្វា ។ បេ ។ អញ្ញតរា គោមយហារិកា បស្សិត្វា អង្គជាតេ អភិនិសីទិ ។ សោ ភិក្ខុ បវេសនំ សាទិយិ បវិដ្ឋំ សាទិយិ



អង្គជាតគួរដល់កម្ម ព្រោះតម្រេករបស់ភិក្ខុនោះ មិនមែនជាហេតុ មិនមែនជាឱកាសឡើយ ម្នាលភិក្ខុទាំងឡាយ ភិក្ខុនោះ ជាអរហន្ត ម្នាលភិក្ខុទាំងឡាយ ភិក្ខុនោះ ឥតមានត្រូវអាបត្តិឡើយ ។

(៦៨) សម័យនោះឯង មានភិក្ខុ ១ រូបទៅកាន់ទីសម្រាកក្នុងវេលាថ្ងៃក្នុងព្រៃអន្ធវន ទៀបនគរសាវត្ថី ហើយសិងលក់ទៅ ។ មានស្រីគង្វាលគោម្នាក់ឃើញ ហើយទៅអង្គុយសង្កត់ពីលើអង្គជាតភិក្ខុនោះ ។ ភិក្ខុនោះកាលអង្គជាតកំពុងតែចូលទៅក៏ត្រេកអរ ចូលស៊ប់ទៅហើយក៏ត្រេកអរ ស្ថិតនៅទាំងក្នុងក៏ត្រេកអរ បន្ធូរចេញមកវិញក៏ត្រេកអរ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានភិក្ខុ ១ រូបទៅកាន់ទីសម្រាកក្នុងវេលាថ្ងៃក្នុងព្រៃអន្ធវន ទៀបនគរសាវត្ថី ហើយសិងលក់ទៅ ។ មានស្រីគង្វាលពពែម្នាក់បានឃើញភិក្ខុនោះ ។ បេ ។ មានស្រីអ្នករកឧសម្នាក់បានឃើញភិក្ខុនោះ ។ បេ ។ មានស្រីអ្នករើសអាចម៍គោម្នាក់បានឃើញភិក្ខុនោះ ក៏ទៅអង្គុយសង្កត់ពីលើអង្គជាត ។ ភិក្ខុនោះ កាលដែលអង្គជាតកំពុងចូលទៅក៏ត្រេកអរ ចូលស៊ប់ទៅហើយក៏ត្រេកអរ

ឋិតំ សាទិយិ ឧទ្ធរណំ សាទិយិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តិ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៦៨) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ វេសាលិយំ មហាវនេ ទិវាវិហារគតោ និបន្នោ ហោតិ ។ អញ្ញតរា ឥត្ថី បស្សិត្វា អង្គជាតេ អភិនិសីទិត្វា យាវទត្ថំ កត្វា សាមន្តា ហសមានា ឋិតា ហោតិ ។ សោ ភិក្ខុ បដិពុជ្ឈិត្វា តំ ឥត្ថឹ ឯតទវោច តុយ្ហិទំ កម្មន្តិ ។ អាម មយ្ហិទំ(១) កម្មន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ ជានាសិ(២) ត្វំ ភិក្ខូតិ ។ នាហំ ភគវា ជានាមីតិ ។ អនាបត្តិ ភិក្ខុ អជានន្តស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ វេសាលិយំ មហាវនេ ទិវាវិហារគតោ រុក្ខំ អបស្សាយ និបន្នោ ហោតិ ។ អញ្ញតរា ឥត្ថី បស្សិត្វា អង្គជាតេ អភិនិសីទិ ។ សោ ភិក្ខុ សហសា វុដ្ឋាសិ ។

១ ឱ. ម. មយ្ហំ ។ ២ ឱ. ម. សាទិយិ ។



ស៊ប់នៅក៏ត្រេកអរ ចង្ហុយចេញមកវិញក៏ត្រេកអរ ។ ភិក្ខុនោះ មានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

(៦៨) សម័យនោះឯង មានភិក្ខុ ១ រូប ទៅកាន់ទីសម្រាកក្នុងវេលាថ្ងៃក្នុងព្រៃមហាវន ទៀបក្រុងវេសាលីហើយសឹងលក់ទៅ ។ មានស្រីម្នាក់បានឃើញ ក៏ទៅអង្គុយសង្កត់ពីលើអង្គជាត លុះធ្វើកិច្ចសម្រេចហើយ ក៏មកឈរសើចជិតភិក្ខុនោះ ។ ភិក្ខុនោះ ភ្ញាក់ឡើងហើយនិយាយទៅនឹងស្រីនោះថា អំពើនេះជាអំពើរបស់នាងឬ ។ ស្រីនោះឆ្លើយថា ករុណាលោកម្ចាស់ អំពើនេះជាអំពើរបស់ខ្ញុំករុណា ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងដឹងដែរឬ ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមិនដឹងទេ ។ ព្រះពុទ្ធជាម្ចាស់ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងកាលបើមិនដឹង មិនមានអាបត្តិទេ ។ សម័យនោះ មានភិក្ខុ ១ រូបទៅកាន់ទីសម្រាកក្នុងវេលាថ្ងៃក្នុងព្រៃមហាវន ជិតក្រុងវេសាលី ហើយសឹងលក់ផ្អែកនឹងដើមឈើ ១ ។ មានស្រីម្នាក់បានឃើញក៏ទៅអង្គុយសង្កត់ពីលើអង្គជាត ។ ភិក្ខុនោះក៏ក្រោកឡើងដោយរហ័ស ។

តស្ស កុក្កុច្ចំ អហោសិ ។បេ។ សាទិយិ ត្វំ ភិក្ខូតិ ។ នាហំ ភគវា សាទិយិន្តិ ។ អនាបត្តិ ភិក្ខុ អសាទិយន្តស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ វេសាលិយំ មហាវនេ ទិវាវិហារគតោ រុក្ខំ អបស្សាយ និបន្នោ ហោតិ ។ អញ្ញតរា ឥត្ថី បស្សិត្វា អង្គជាតេ អភិនិសីទិ ។ សោ ភិក្ខុ អក្កមិត្វា បវដ្ដេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ សាទិយិ ត្វំ ភិក្ខូតិ ។ នាហំ ភគវា សាទិយិន្តិ ។ អនាបត្តិ ភិក្ខុ អសាទិយន្តស្សាតិ ។

(៨០) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ វេសាលិយំ មហាវនេ កូដាគារសាលាយំ ទិវាវិហារគតោ ទ្វារំ វិវរិត្វា និបន្នោ ហោតិ ។ តស្ស អង្គមង្គានិ វាតុបត្ថទ្ធានិ ហោន្តិ ។ តេន ខោ បន សមយេន សម្ពហុលា ឥត្ថិយោ គន្ធញ្ច មាលញ្ច អាទាយ អារាមំ អគមំសុ វិហារបេក្ខិកាយោ ។ អថខោ តា ឥត្ថិយោ តំ ភិក្ខុំ បស្សិត្វា អង្គជាតេ អភិនិសីទិត្វា



ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងត្រេកអរដែរឬ ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមិនត្រេកអរទេ ។ ព្រះដ៏មានបុណ្យទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងកាលបើមិនត្រេកអរ មិនត្រូវអាបត្តិទេ ។ សម័យនោះ មានភិក្ខុ ១ រូបទៅកាន់ទីសម្រាកក្នុងវេលាថ្ងៃក្នុងព្រៃមហាវ័ន ជិតនគរវេសាលី ហើយសឹងលក់ផ្អែកនឹងដើមឈើ ១ ។ មានស្រីម្នាក់ឃើញហើយក៏ទៅអង្គុយសង្កត់ពីលើអង្គជាត ។ ភិក្ខុនោះ ក៏ធាក់ច្រាន (ឲ្យស្រីនោះ) ធ្លាក់ចេញទៅ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់សួរថា ម្នាលភិក្ខុ អ្នកត្រេកអរឬទេ ។ ភិក្ខុនោះក្រាបទូលវិញថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមិនត្រេកអរទេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកកាលបើមិនត្រេកអរ មិនមានអាបត្តិទេ ។

(៨០) សម័យនោះ មានភិក្ខុ ១ រូប ទៅកាន់ទីសម្រាកក្នុងវេលាថ្ងៃ ក្នុងកូដាគារសាលា ក្នុងព្រៃមហាវ័ន ជិតនគរវេសាលី បើកទ្វារហើយចូលទៅសឹង ។ អវយវៈតូចធំរបស់ភិក្ខុនោះ មានខ្យល់បក់មកឲ្យតឹង (ទាំងឡើងលត់សិច) ។ សម័យនោះ មានស្រីទាំងឡាយច្រើនគ្នា មានប្រាថ្នាចង់នឹងទៅក្តី ទើបកាន់នូវគ្រឿងក្រអូបនិង ផ្កាកម្រងនិង ដើរទៅកាន់អារាម ។ គ្រានោះ ស្រីទាំងអស់នោះបានឃើញភិក្ខុនោះហើយក៏អង្គុយ

យាវទត្ថំ កត្វា បុរិសុសភោ វតាយន្តិ វត្វា គន្ធញ្ច មាលញ្ច អារោបេត្វា បក្កមិំសុ ។ ភិក្ខូ កិលិន្នំ បស្សិត្វា ភគវតោ ឯតមត្ថំ អារោចេសុំ[១] ។ បញ្ចហិ ភិក្ខវេ អាការេហិ អង្គជាតំ កម្មនិយំ ហោតិ រាគេន វច្ចេន បស្សាវេន វាតេន ឧច្ចាលិង្គបាណកទដ្ឋេន ឥមេហិ ខោ ភិក្ខវេ បញ្ចហាការេហិ អង្គជាតំ កម្មនិយំ ហោតិ អដ្ឋានមេតំ ភិក្ខវេ អនវកាសោ យំ តស្ស ភិក្ខុនោ រាគេន អង្គជាតំ កម្មនិយំ អស្ស អរហំ សោ ភិក្ខវេ ភិក្ខុ អនាបត្តិ ភិក្ខវេ តស្ស ភិក្ខុនោ អនុជានាមិ ភិក្ខវេ ទិវា បដិសល្លីយន្តេន ទ្វារំ សំវរិត្វា បដិសល្លីយិតុន្តិ ។

(៧១) តេន ខោ បន សមយេន ភារុកច្ឆកោ ភិក្ខុ សុបិនន្តេន បុរាណទុតិយិកាយ មេថុនំ ធម្មំ បដិសេវិត្វា អស្សមណោ អហំ វិព្ភមិស្សាមីតិ ភារុកច្ឆំ គច្ឆន្តោ

១ [illegible]



សង្កត់ពីលើអង្គជាតធ្វើ (សេវនកិច្ច) ដរាបដល់ហើយស្រេច ទើបនិយាយថា ឱហ្ន៎ ភិក្ខុនេះ ជាបុរសឧសភៈ ដូច្នេះហើយ លើកទៀន ធូបគ្រឿងក្រអូបនឹងផ្កាកម្រងហើយក៏ដើរចៀសចេញទៅ ។ ភិក្ខុនោះឃើញសេចក្តីសៅហ្មងក៏ក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់មានព្រះពុទ្ធដីកាថា ម្នាលភិក្ខុទាំងឡាយ អង្គជាតគួរដល់កម្ម ដោយអាការ៥យ៉ាងគឺ ដោយតម្រេក ១ ដោយអាចម៍ ១ ដោយទឹកមូត្រ ១ ដោយខ្យល់ ១ ដោយដង្កូវខាំស្រពេល ១ ម្នាលភិក្ខុទាំងឡាយ អង្គជាតគួរដល់កម្ម ដោយអាការ៥យ៉ាងនេះឯង ម្នាលភិក្ខុទាំងឡាយ អង្គជាតគួរដល់កម្ម ព្រោះតម្រេករបស់ភិក្ខុនោះ មិនមែនជាហេតុជាទីតាំង មិនមែនជាឱកាសឡើយ ម្នាលភិក្ខុទាំងឡាយ ភិក្ខុនោះជាអរហន្ត ម្នាលភិក្ខុទាំងឡាយ ភិក្ខុនោះមិនមានអាបត្តិឡើយ ម្នាលភិក្ខុទាំងឡាយ តថាគតអនុញ្ញាតឲ្យភិក្ខុ កាលដែលសឹងសម្ងំក្នុងវេលាថ្ងៃ ត្រូវបិទទ្វារ ហើយសឹមសម្ងំចុះ ។

(៧១) សម័យនោះ មានភិក្ខុ១រូបជាអ្នកស្រុកភារុកច្ឆៈ យល់សប្តិឃើញថា សេពមេថុនធម្មនឹងនាងបុរាណទុតិយិកា ហើយគិតថាខ្លួនអញមិនមែនជាសមណៈទេ អញនឹងសឹកទៅវិញ ដូច្នេះហើយដើរទៅកាន់

អន្តរាមគ្គេ អាយស្មន្តំ ឧបាលឹ បស្សិត្វា ឯតមត្ថំ អារោចេសិ ។ អាយស្មា ឧបាលិ ឯវមាហ អនាបត្តិ អាវុសោ សុបិនន្តេនាតិ ។

(៣២) តេន ខោ បន សមយេន រាជគហេ សុបព្ពា នាម ឧបាសិកា មុទ្ធប្បសន្នា[១] ហោតិ ។ សា ឯវំទិដ្ឋិកា ហោតិ យា មេថុនំ ធម្មំ ទេតិ សា អគ្គទានំ ទេតីតិ ។ សា ភិក្ខុំ បស្សិត្វា ឯតទវោច ឯហិ ភន្តេ មេថុនំ ធម្មំ បដិសេវាហីតិ ។ អលំ ភគិនិ នេតំ កប្បតីតិ ។ ឯហិ ភន្តេ ឩរន្តរិកាយ[២] ឃដ្ដេហិ ឯវំ តេ អនាបត្តិ ភវិស្សតីតិ ។ សោ ភិក្ខុ តថា អកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ សង្ឃាទិសេសស្សាតិ ។ តេន ខោ បន សមយេន រាជគហេ សុបព្ពា នាម ឧបាសិកា មុទ្ធប្បសន្នា ហោតិ ។ សា ឯវំទិដ្ឋិកា ហោតិ

១ យោជនាយំ មុទ្ធប្បសន្នាតិ ទិស្សតិ ។ ២ ឱ. ម. ឩរន្តរិកាយ ។



ជនបទឈ្មោះ ភារុកច្ឆៈ ក៏បានឃើញព្រះឧបាលិដ៏មានអាយុក្នុងទីពាក់កណ្ដាលផ្លូវ ហើយនិយាយប្រាប់រឿងនុ៎ះ ។ ព្រះឧបាលិថេរដ៏មានអាយុ បានឆ្លើយយ៉ាងនេះថា ម្នាលអាវុសោ ឥតមានអាបត្តិព្រោះចំណែកនៃយល់សប្តិនោះទេ ។

(៣២) សម័យនោះ ក្នុងក្រុងរាជគ្រឹះ មានឧបាសិកាម្នាក់ឈ្មោះសុបព្ពា ជាស្រីមានសេចក្ដីជ្រះថ្លាខ្សោយ ។ នាងមានសេចក្ដីយល់ឃើញយ៉ាងនេះថា ស្រីណាឲ្យនូវមេថុនធម្ម ស្រីនោះឈ្មោះថាឲ្យនូវទានដ៏ប្រសើរ ។ លុះដល់នាងបានឃើញភិក្ខុ ១ រូប ក៏និយាយនិមន្តថា លោកម្ចាស់ សូមលោកនិមន្តមកសេពមេថុនធម្មចុះ ។ ភិក្ខុនោះប្រកែកថា កុំប្អូនស្រី ការសេពមេថុនធម្មនោះមិនគួរទេ ។ នាងសុបព្ពាពោលថា លោកម្ចាស់ សូមលោកនិមន្តបញ្ជ្រាបត្រង់ចន្លោះភ្លៅចុះ កាលបើលោកបញ្ជ្រាបដូច្នេះ លោកនឹងមិនមានអាបត្តិឡើយ ។ ភិក្ខុនោះក៏បានធ្វើតាមពាក្យនោះ ។ ទើបភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិសង្ឃាទិសេស ។ សម័យនោះ ក្នុងក្រុងរាជគ្រឹះ មានឧបាសិកាម្នាក់ឈ្មោះសុបព្ពា ជាស្រីមានសេចក្ដីជ្រះថ្លាខ្សោយ ។ នាងមានសេចក្ដីយល់ឃើញយ៉ាងនេះថា

យា មេថុនំ ធម្មំ ទេតិ សា អគ្គទានំ ទេតីតិ ។ សា ភិក្ខុំ បស្សិត្វា ឯតទវោច ឯហិ ភន្តេ មេថុនំ ធម្មំ បដិសេវាតិ ។ អលំ ភគិនិ នេតំ កប្បតីតិ ។ ឯហិ ភន្តេ នាភិយំ[១] ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ ឧទរវដ្ដិយំ[២] ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ ឧបកច្ឆកេ ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ គីវាយំ[៣] ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ កណ្ណច្ឆិទ្ទេ ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ កេសវដ្ដិយំ[៤] ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ អង្គុលន្តរិកាយ ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ ហត្ថេន ឧបក្កមិត្វា មោចេស្សាមិ ឯវន្តេ អនាបត្តិ ភវិស្សតីតិ ។ សោ ភិក្ខុ តថា អកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ សង្ឃាទិសេសស្សាតិ ។

១ ឱ. ម. នាភិយា ។ ២ ឱ. ម. ឧទរវដ្ដិយា ។ ៣ ឱ. ម. គីវាយ ។ ៤ ឱ. ម. កេសវដ្ដិយា ។



ស្រីណាឲ្យខ្លួនមេថុនធម្ម ស្រីនោះឈ្មោះថាឲ្យខ្លួនតាមធម៌ប្រសើរ ។ លុះដល់ស្រីនោះបានឃើញភិក្ខុ ១ រូប ក៏និយាយនិមន្តថា លោកម្ចាស់ សូមលោកនិមន្តមកសេពមេថុនធម្មចុះ ។ ភិក្ខុនោះប្រកែកថា កុំប្អូនស្រី ការសេពមេថុនធម្មនោះមិនគួរទេ ។ នាងសូមអង្វរពោលថា លោកម្ចាស់ សូមលោកនិមន្តមកព្យាយាមត្រង់ផ្ចិតចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកព្យាយាមត្រង់ផ្នត់ពោះចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកព្យាយាមត្រង់ក្លៀកចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកព្យាយាមត្រង់កចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកព្យាយាមត្រង់រន្ធត្រចៀកចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកព្យាយាមត្រង់ផ្នួងសក់ចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកព្យាយាមត្រង់ចន្លោះម្រាមដៃចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកចុះ ខ្ញុំព្រះករុណានឹងព្យាយាមឲ្យចេញទឹកសុក្កៈដោយដៃខ្ញុំ កាលបើដូច្នេះ លោកនឹងមិនមានអាបត្តិទេឡើយ ។ ភិក្ខុនោះក៏បានធ្វើតាមពាក្យនោះ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិសង្ឃាទិសេស ។

(៧៣) តេន ខោ បន សមយេន សាវត្ថិយំ សទ្ធា នាម ឧបាសិកា មុទុប្បសន្នា ហោតិ ។ សា ឯវំទិដ្ឋិកា ហោតិ យា មេថុនំ ធម្មំ ទេតិ សា អគ្គទានំ ទេតីតិ ។ សា ភិក្ខុំ បស្សិត្វា ឯតទវោច ឯហិ ភន្តេ មេថុនំ ធម្មំ បដិសេវាតិ ។ អលំ ភគិនិ នេតំ កប្បតីតិ ។ ឯហិ ភន្តេ ឩរន្តរិកាយ ឃដ្ដេហិ ឯវន្តេ អនាបត្តិ ភវិស្សតីតិ ។ សោ ភិក្ខុ តថា អកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ សង្ឃាទិសេសស្សាតិ ។

(៧៤) តេន ខោ បន សមយេន សាវត្ថិយំ សទ្ធា នាម ឧបាសិកា មុទុប្បសន្នា ហោតិ ។ សា ឯវំទិដ្ឋិកា ហោតិ យា មេថុនំ ធម្មំ ទេតិ សា អគ្គទានំ ទេតីតិ ។ សា ភិក្ខុំ បស្សិត្វា ឯតទវោច ឯហិ ភន្តេ មេថុនំ ធម្មំ បដិសេវាតិ ។ អលំ ភគិនិ នេតំ កប្បតីតិ ។ ឯហិ ភន្តេ នាភិយំ



(៧៣) សម័យនោះ ក្នុងក្រុងសាវត្ថី មានឧបាសិកាម្នាក់ឈ្មោះ សទ្ធា ជាអ្នកមានសេចក្តីជ្រះថ្លាខ្លាំង ។ នាងមានសេចក្តីយល់ឃើញដូច្នេះថា ស្រីណាឲ្យនូវមេថុនធម្ម ស្រីនោះឈ្មោះថាឲ្យនូវទានដ៏ប្រសើរ ។ លុះវេលានាងបានឃើញភិក្ខុ ១ រូប ក៏និយាយនឹងភិក្ខុថា លោកម្ចាស់ សូមលោកនិមន្តមកសេពមេថុនធម្មចុះ ។ ភិក្ខុនោះប្រាប់ថា កុំប្អូនស្រី ការសេពមេថុនធម្មនោះមិនគួរទេ ។ នាងសទ្ធាពោលថា លោកម្ចាស់ សូមលោកនិមន្តមកត្របាបត្រង់ចន្លោះភ្លៅចុះ កាលបើដូច្នេះ លោកនឹងមិនមានអាបត្តិឡើយ ។ ភិក្ខុនោះក៏បានធ្វើតាមពាក្យនោះទៅ ។ ហើយភិក្ខុនោះកើតមានសេចក្តីសង្ស័យ ។ បេ ។ ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិសង្ឃាទិសេស ។

(៧៤) សម័យនោះ ក្នុងក្រុងសាវត្ថី មានឧបាសិកាម្នាក់ឈ្មោះសទ្ធា ជាស្រីមានសេចក្តីជ្រះថ្លាខ្លាំង ។ នាងមានសេចក្តីយល់ឃើញដូច្នេះថា ស្រីណាឲ្យនូវមេថុនធម្ម ស្រីនោះឈ្មោះថាឲ្យនូវទានដ៏ប្រសើរ ។ លុះនាងបានឃើញភិក្ខុ ១ រូប ក៏និយាយនឹងភិក្ខុថា លោកម្ចាស់ សូមលោកនិមន្តមកសេពមេថុនធម្មចុះ ។ ភិក្ខុនោះប្រាប់ថា កុំប្អូនស្រី ការសេពមេថុនធម្មនោះមិនគួរទេ ។ នាងសទ្ធាពោលថា លោកម្ចាស់ សូមលោកនិមន្តមក

ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ ឧទរវដ្ដិយំ ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ ឧបកច្ឆកេ ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ គីវាយំ ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ កណ្ណច្ឆិទ្ទេ ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ កេសវដ្ដិយំ ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ អង្គុលន្តរិកាយ ឃដ្ដេហិ ។ បេ ។ ឯហិ ភន្តេ ហត្ថេន ឧបក្កមិត្វា មោចេស្សាមិ ឯហិ ភន្តេ អនាបត្តិ ភវិស្សតីតិ ។ សោ ភិក្ខុ តថា អកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ សង្ឃាទិសេសស្សាតិ[១] ។

(៧៨) តេន ខោ បន សមយេន វេសាលិយំ លិច្ឆវិកុមារកា ភិក្ខុំ គហេត្វា ភិក្ខុនិយា វិប្បដិបាទេសុំ ។ ឧភោ សាទិយឹសុ ឧភោ នាសេតព្វា ។ ឧភោ ន សាទិយឹសុ ឧភិន្នំ អនាបត្តិ ។

១ យថា ចុទ្ទសេសុ វត្ថូសុ វិសេសតា ទិស្សតិ តថា តេរសសុ វត្ថូសុ ។



ក្បាយាមត្រង់ផ្ចិតចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកក្បាយាមត្រង់ផ្នត់ពោះចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកក្បាយាមត្រង់ក្លៀកចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកក្បាយាមត្រង់កចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកក្បាយាមត្រង់រន្ធត្រចៀកចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកក្បាយាមត្រង់ផ្នួងសក់ចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកក្បាយាមត្រង់ចន្លោះម្រាមដៃចុះ ។ បេ ។ លោកម្ចាស់ សូមលោកនិមន្តមកចុះ ខ្ញុំព្រះករុណានឹងក្បាយាមឲ្យចេញទឹកសុក្កៈដោយដៃខ្ញុំ កាលបើដូច្នេះ លោកនឹងមិនមានអាបត្តិឡើយ ។ ភិក្ខុនោះក៏បានធ្វើតាមពាក្យនោះទៅ ។ រួចភិក្ខុនោះកើតមានសេចក្ដីសង្ស័យ ។ បេ ។ ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិសង្ឃាទិសេស ។

(៧៨) សម័យនោះ ពួកលិច្ឆវិកុមារក្នុងក្រុងវេសាលីនាំភិក្ខុ ១ រូបទៅហើយ ឲ្យធ្វើអំពើមិនគាប់ជាមួយនឹងភិក្ខុនី ។ បើអ្នកទាំងពីរមានសេចក្ដីត្រេកអរដូចគ្នា សង្ឃត្រូវឲ្យអ្នកទាំងពីរសឹកចេញ ។ បើអ្នកទាំងពីរអត់មានសេចក្ដីត្រេកអរទេ អ្នកទាំងពីរមិនមានអាបត្តិឡើយ ។

តេន ខោ បន សមយេន វេសាលិយំ លិច្ឆវិកុមារកា ភិក្ខុំ គហេត្វា សិក្ខមានាយ វិប្បដិបាទេសុំ ។ បេ ។ សាមណេរិយា វិប្បដិបាទេសុំ ។ ឧភោ សាទិយឹសុ ឧភោ នាសេតព្វា ។ ឧភោ ន សាទិយឹសុ ឧភិន្នំ អនាបត្តិ ។

(៧៦) តេន ខោ បន សមយេន វេសាលិយំ លិច្ឆវិកុមារកា ភិក្ខុំ គហេត្វា វេសិយា វិប្បដិបាទេសុំ ។ បេ ។ បណ្ឌកេ វិប្បដិបាទេសុំ ។ បេ ។ គិហិនិយា វិប្បដិបាទេសុំ ។ ភិក្ខុ សាទិយិ ភិក្ខុ នាសេតព្វោ ។ ភិក្ខុ ន សាទិយិ ភិក្ខុស្ស អនាបត្តិ ។ តេន ខោ បន សមយេន វេសាលិយំ លិច្ឆវិកុមារកា ភិក្ខុំ គហេត្វា អញ្ញមញ្ញំ វិប្បដិបាទេសុំ ។ ឧភោ សាទិយឹសុ ឧភោ នាសេតព្វា ។ ឧភោ ន សាទិយឹសុ ឧភិន្នំ អនាបត្តិ ។

(៧៧) តេន ខោ បន សមយេន អញ្ញតរោ វុឌ្ឍបព្វជិតោ ភិក្ខុ បុរាណទុតិយិកាយ ទស្សនំ អគមាសិ ។



សម័យនោះ ក្មេងក្រុងវេសាលី ពួកលិច្ឆវីកុមារនាំភិក្ខុ ១ រូបទៅ ហើយឲ្យប្រព្រឹត្តមោះមិនគាប់ជាមួយនឹងសិក្ខមានា ។ បេ ។ ឲ្យប្រព្រឹត្តមោះមិនគាប់ជាមួយនឹងសាមណេរី ។ បើអ្នកទាំងពីរត្រេកអរដូចគ្នាហើយ សង្ឃត្រូវឲ្យអ្នកទាំងពីរសឹកចេញ ។ បើអ្នកទាំងពីរឥតមានសេចក្តីត្រេកអរទេ អ្នកទាំងពីរឥតមានអាបត្តិឡើយ ។

(៧៦) សម័យនោះ ក្មេងក្រុងវេសាលី ពួកលិច្ឆវីកុមារនាំភិក្ខុ ១ រូបទៅហើយឲ្យប្រព្រឹត្តមោះមិនគាប់ជាមួយនឹងស្រីវេស្យា ។ បេ ។ ឲ្យប្រព្រឹត្តមោះមិនគាប់ជាមួយនឹងមនុស្សខ្ទើយ ។ បេ ។ ឲ្យប្រព្រឹត្តមោះមិនគាប់ជាមួយនឹងស្រីគ្រហស្ថ ។ បើភិក្ខុមានសេចក្តីត្រេកអរ សង្ឃត្រូវឲ្យភិក្ខុ (នោះ) សឹកចេញ ។ បើភិក្ខុឥតមានសេចក្តីត្រេកអរទេ ភិក្ខុ (នោះ) ក៏ឥតមានអាបត្តិអ្វីឡើយ ។ សម័យនោះ ក្មេងក្រុងវេសាលី ពួកលិច្ឆវីកុមារនាំភិក្ខុ ១ រូបទៅ ហើយឲ្យប្រព្រឹត្តមោះមិនគាប់ចំពោះគ្នានឹងគ្នា ។ បើអ្នកទាំងពីរមានសេចក្តីត្រេកអរដូចគ្នា សង្ឃត្រូវឲ្យអ្នកទាំងពីរសឹកចេញ ។ បើអ្នកទាំងពីរឥតមានសេចក្តីត្រេកអរទេ អ្នកទាំងពីរឥតមានអាបត្តិឡើយ ។

(៧៧) សម័យនោះឯង មានភិក្ខុមួយរូប បួសចាស់ ទើបនឹងទៅសួរភរិយាដែលជាគូស្រករ (របស់ខ្លួន) ពីដើម ។

សា បេហិ កត្វា អង្គជាតំ អគ្គហេសិ ។ សោ ភិក្ខុ បដិក្កមន្តោ ឧត្តានោ បរិបតិ ។ សា ឧព្ភជិត្វា អង្គជាតេ អភិនិសីទិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ សាទិយិ ត្វំ ភិក្ខូតិ ។ នាហំ ភគវា សាទិយិន្តិ ។ អនាបត្តិ ភិក្ខុ អសាទិយន្តស្សាតិ ។

[៧៨] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អរញ្ញេ វិហរតិ ។ មិគបោតកោ តស្ស បស្សាវដ្ឋានំ អាគន្ត្វា បស្សាវំ បិវន្តោ មុខេន អង្គជាតំ អគ្គហេសិ ។ សោ ភិក្ខុ សាទិយិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អាបត្តិំ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

បឋមបារាជិកំ និដ្ឋិតំ ។



ឯករ៉ោយ ក៏និយាយថា បពិត្រលោកដ៏ចំរើន លោកគួរតែមនុស្សសឹកចេញទៅ ជាហើយក៏ស្ទុះទៅចាប់ ។ ភិក្ខុនោះថយថោះខ្លួន ក៏ដួលផ្ងារទៅក្រោយ ។ ស្ត្រីនោះក៏ឡើងជិះអង្គុយសង្កត់ពីលើអង្គជាត ។ ទើបភិក្ខុនោះមានសេចក្ដីសង្ស័យ ។ ហើយបានក្រាបទូលរឿងនុះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះសាស្ដាទ្រង់ត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងបានត្រេកអរដែរឬ ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះអង្គដ៏ចំរើន ខ្ញុំព្រះអង្គមិនបានត្រេកអរទេ ។ ព្រះសាស្ដាទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនបានត្រេកអរ មិនត្រូវអាបត្តិទេ ។

(៧៨) សម័យនោះឯង មានភិក្ខុមួយរូបនៅក្នុងព្រៃ ។ មានកូនម្រឹគ១ ដើរមកកាន់ទីដែលភិក្ខុនោះកំពុងបន្ទោបង់បស្សាវៈ ហើយផឹកទឹកបស្សាវៈ រួចបៀមនូវអង្គជាតភិក្ខុដោយមាត់ ។ ភិក្ខុនោះក៏មានសេចក្ដីត្រេកអរ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ ក៏ក្រាបទូលរឿងនុះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះសាស្ដាទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

បឋមបារាជិក ចប់ ។

## បារាជិកកណ្ឌេ ទុតិយសិក្ខាបទំ

(៨៤) តេន សមយេន ពុទ្ធោ ភគវា រាជគហេ វិហរតិ គិជ្ឈកូដេ បព្វតេ ។ តេន ខោ បន សមយេន សម្ពហុលា សន្ទិដ្ឋា សម្ភត្តា ភិក្ខូ ឥសិគិលិបស្សេ តិណកុដិយោ ករិត្វា វស្សំ ឧបគច្ឆិំសុ ។ អាយស្មាបិ ធនិយោ កុម្ភការបុត្តោ តិណកុដិកំ ករិត្វា វស្សំ ឧបគច្ឆិ ។ អថខោ តេ ភិក្ខូ វស្សំវុត្ថា តេមាសច្ចយេន តិណកុដិយោ ភិន្ទិត្វា តិណញ្ច កដ្ឋញ្ច បដិសាមេត្វា ជនបទចារិកំ បក្កមិំសុ ។ អាយស្មា បន ធនិយោ កុម្ភការបុត្តោ តត្ថេវ វស្សំ វសិ តត្ថ ហេមន្តំ តត្ថ គិម្ហំ ។ អថខោ អាយស្មតោ ធនិយស្ស កុម្ភការបុត្តស្ស គាមំ បិណ្ឌាយ បវិដ្ឋស្ស តិណហារិយោ កដ្ឋហារិយោ តិណកុដិកំ ភិន្ទិត្វា តិណញ្ច កដ្ឋញ្ច អាទាយ អគមំសុ ។ ទុតិយម្បិ ខោ អាយស្មា ធនិយោ កុម្ភការបុត្តោ តិណញ្ច កដ្ឋញ្ច សំកឌ្ឍិត្វា តិណកុដិកំ អកាសិ ។



## បារាជិកកណ្ឌ សិក្ខាបទ ទី ២

(៨៤) សម័យនោះ ព្រះសព្វញ្ញុពុទ្ធមានព្រះភាគ ទ្រង់គង់នៅលើភ្នំគិជ្ឈកូដទៀបក្រុងរាជគ្រឹះ ។ ក្នុងសម័យនោះ មានភិក្ខុច្រើនរូប ជាមិត្តស្លាញ់ ត្រាន់តែជួបឃើញគ្នាខ្លះ ជាមិត្តស្លាញ់នៅរួមជាមួយគ្នាខ្លះ ធ្វើកុដិប្រក់ដោយស្មៅក្បែរភ្នំឥសិគិលិ ហើយចាំវស្សា (នៅនោះ) ។ មានភិក្ខុ (១ រូប) ឈ្មោះធនិយដ៏មានអាយុជាកូនស្មូនឆ្នាំង ធ្វើកុដិតូចប្រក់ដោយស្មៅ ហើយចាំវស្សានៅនោះដែរ ។ គ្រានោះ ភិក្ខុទាំងនោះ លុះចាំវស្សាគ្រប់ ៣ ខែហើយក៏រុះរើកុដិស្មៅនោះ ហើយរៀបចំទុកដាក់ស្មៅនិងឈើ (តាមដោយរៀបស្រួលបួល) ហើយចេញទៅកាន់ជនបទចារិក ។ ចំណែកខាងឯធនិយភិក្ខុដ៏មានអាយុ ជាកូនស្មូនឆ្នាំង ក៏នៅតែក្នុងទីនោះអស់វស្សានោះ ហើយនៅអស់ហេមន្តរដូវ និងគិម្ហរដូវក្នុងទីនោះ (តទៅទៀត) ។ គ្រានោះ កាលដែលធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំង ចូលទៅបិណ្ឌបាតក្នុងស្រុក មានពួកអ្នករកស្មៅនិងពួកអ្នករកឧស នាំគ្នារុះកុដិប្រក់ដោយស្មៅ (របស់ធនិយភិក្ខុ) ហើយប្រមូលយកស្មៅនិងឈើទៅអស់ ។ ធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំង ក៏រកស្មៅនិងឈើមកហើយសង់កុដិប្រក់ដោយស្មៅជាគំរប់ពីរដង ។

ទុតិយម្បិ ខោ អាយស្មតោ ធនិយស្ស កុម្ភការបុត្តស្ស គាមំ បិណ្ឌាយ បវិដ្ឋស្ស តិណហារិយោ កដ្ឋហារិយោ តិណកុដិកំ ភិន្ទិត្វា តិណញ្ច កដ្ឋញ្ច អាទាយ អគមំសុ ។ ទុតិយម្បិ ខោ អាយស្មា ធនិយោ កុម្ភការបុត្តោ តិណញ្ច កដ្ឋញ្ច សំកឌ្ឍិត្វា តិណកុដិកំ អកាសិ ។ តតិយម្បិ ខោ អាយស្មតោ ធនិយស្ស កុម្ភការបុត្តស្ស គាមំ បិណ្ឌាយ បវិដ្ឋស្ស តិណហារិយោ កដ្ឋហារិយោ តិណកុដិកំ ភិន្ទិត្វា តិណញ្ច កដ្ឋញ្ច អាទាយ អគមំសុ ។ អថខោ អាយស្មតោ ធនិយស្ស កុម្ភការបុត្តស្ស ឯតទហោសិ យាវតតិយកំ ខោ មេ គាមំ បិណ្ឌាយ បវិដ្ឋស្ស តិណហារិយោ កដ្ឋហារិយោ តិណកុដិកំ ភិន្ទិត្វា តិណញ្ច កដ្ឋញ្ច អាទាយ អគមំសុ អហំ ខោ បន សុសិក្ខិតោ អនវយោ សកេ អាចរិយកេ កុម្ភការកម្មេ បរិយោទាតសិប្បោ យន្នូនាហំ សាមំ ចិក្ខល្លំ មទ្ទិត្វា សព្វមត្តិកាមយំ កុដិកំ ករេយ្យន្តិ ។ អថខោ



កាលធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំង ចូលទៅបិណ្ឌបាតក្នុងស្រុក ពួកអ្នករកស្មៅនិងពួកអ្នករកឧស ក៏រុះកុដិស្មៅហើយដឹកជញ្ជូនយកស្មៅនិងឈើទៅទៀតជាគំរប់ពីរដង ។ ធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំង ក៏រកស្មៅនិងឈើមកហើយសង់កុដិស្មៅជាគំរប់ពីរដង ។ កាលធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំង ចូលទៅបិណ្ឌបាតក្នុងស្រុក ពួកអ្នករកស្មៅនិងពួកអ្នករកឧស ក៏រុះកុដិស្មៅហើយដឹកជញ្ជូនយកស្មៅនិងឈើទៅទៀតជាគំរប់បីដង ។ គ្រានោះ ធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំង ត្រិះរិះថា កាលអញចូលទៅបិណ្ឌបាតក្នុងស្រុក មានពួកអ្នករកស្មៅនិងពួកអ្នករកឧសមករុះកុដិ ហើយយកស្មៅនិងឈើទៅអស់ ដរាបអស់វារៈបីដងហើយ ឯខ្លួនអញជាអ្នកសិក្សារៀនសូត្រដោយពេញលេញ ឥតមានខ្វះខាតដោយសិល្បសាស្ត្រណាមួយឡើយ បានចេះប្រាកដក្នុងសិល្បសាស្ត្រខាងការធ្វើស្មូនឆ្នាំង ក្នុងសំណាក់គ្រូអាចារ្យរបស់ខ្លួនមកហើយដែរ បើដូច្នោះ មានតែអញត្រូវជាន់ដីដោយខ្លួនឯង ហើយធ្វើកុដិតូច ១ ឲ្យសុទ្ធដោយដីទាំងអស់ ។ លំដាប់នោះ ធនិយភិក្ខុដ៏

អាយស្មា ធនិយោ កុម្ភការបុត្តោ សាមំ ចិក្ខល្លំ មទ្ទិត្វា សព្វមត្តិកាមយំ កុដិកំ ករិត្វា តិណញ្ច កដ្ឋញ្ច គោមយញ្ច សំកឌ្ឍិត្វា តំ កុដិកំ បចិ ។ សា អហោសិ កុដិកា អភិរូបា ទស្សនីយា បាសាទិកា លោហិតកា(១) សេយ្យថាបិ ឥន្ទគោបកោ ។ សេយ្យថាបិ នាម កិង្កិណិកសទ្ទោ ឯវមេវ តស្សា កុដិកាយ សទ្ទោ អហោសិ ។ អទ្ទសា ខោ ភគវា សម្ពហុលេហិ ភិក្ខូហិ សទ្ធឹ គិជ្ឈកូដា បព្វតា ឱរោហន្តោ អទ្ទស តំ កុដិកំ អភិរូបំ ទស្សនីយំ បាសាទិកំ លោហិតកំ ទិស្វាន ភិក្ខូ អាមន្តេសិ កិំ ឯតំ ភិក្ខវេ អភិរូបំ ទស្សនីយំ បាសាទិកំ លោហិតកំ សេយ្យថាបិ ឥន្ទគោបកោតិ ។ អថខោ តេ ភិក្ខូ ភគវតោ ឯតមត្ថំ អារោចេសុំ ។ វិគរហិ ពុទ្ធោ ភគវា អននុច្ឆវិកំ ភិក្ខវេ តស្ស មោឃ-បុរិសស្ស អននុលោមិកំ អប្បតិរូបំ អស្សាមណកំ

១ ឱ. ម. លោហិតិកា ។



មានអាយុជាកូនស្មូនឆ្នាំង ក៏ជាន់ដីដោយខ្លួនឯងហើយធ្វើកុដិសុទ្ធដោយដីសុទ្ធទាំងអស់ រួចហើយយកស្មៅ ឧស នឹងអាចម៍គោមកដុតកុដិនោះ (ដើម្បីឲ្យឆ្អិន) ។ កុដិនោះមានទ្រង់ទ្រាយល្អ គួរពិតមើល គួរឲ្យកើតសេចក្ដីជ្រះថ្លា មានពណ៌ក្រហម ដូចជាពណ៌នៃសត្វមេគ្រៀង ។ កុដិនោះ (កាលបើមានខ្យល់បក់មកត្រូវក៏មានសម្លេងលាន់ឮ) បីដូចជាសម្លេងកណ្ដឹង ។ គ្រានោះឯង ព្រះដ៏មានព្រះភាគជាម្ចាស់ កាលយាងចុះពីភ្នំគិជ្ឈកូដ ជាមួយនឹងភិក្ខុច្រើនរូប ទ្រង់ទតទៅឃើញកុដិនោះមានទ្រង់ទ្រាយល្អ គួរពិតមើល គួរឲ្យកើតសេចក្ដីជ្រះថ្លា មានពណ៌ក្រហម លុះទតហើយទើបត្រាស់ហៅភិក្ខុទាំងឡាយមកហើយមានព្រះបន្ទូលថា ម្នាលភិក្ខុទាំងឡាយ កុដិនោះមានទ្រង់ទ្រាយល្អ គួរពិតមើល គួរឲ្យកើតសេចក្ដីជ្រះថ្លា មានពណ៌ក្រហម ដូចជាពណ៌នៃសត្វមេគ្រៀងឬអ្វី ។ ភិក្ខុទាំងឡាយក៏ក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគគ្រានោះ ។ ព្រះសម្ពុទ្ធដ៏មានព្រះភាគទ្រង់តិះដៀលថា ម្នាលភិក្ខុទាំងឡាយ (ការធ្វើ) របស់មោឃបុរសនោះជាការមិនសមគួរ មិនមានទំនង មិនមានបែបផែន មិនមែនជារបស់សមណៈ

អកប្បិយំ អករណីយំ កថំ ហិ នាម សោ ភិក្ខវេ មោឃបុរិសោ សាមំ ចិក្ខល្លំ មទ្ទិត្វា សព្វមត្តិកាមយំ កុដិកំ ករិស្សតិ ន ហិ នាម ភិក្ខវេ តស្ស មោឃបុរិសស្ស បាណេសុ អនុទ្ទយា អនុកម្បា អវិហេសា ភវិស្សតិ គច្ឆថេតំ ភិក្ខវេ កុដិកំ ភិន្ទថ មា បច្ឆិមា ជនតា បាណេសុ បាតព្យតំ[១] អាបជ្ជិ ន ច ភិក្ខវេ សព្វមត្តិកាមយា កុដិកា កាតព្វា យោ ករេយ្យ អាបត្តិ ទុក្កដស្សាតិ ។ ឯវំ ភន្តេតិ ខោ តេ ភិក្ខូ ភគវតោ បដិស្សុណិត្វា យេន សា កុដិកា តេនុបសង្កមិំសុ ឧបសង្កមិត្វា តំ កុដិកំ ភិន្ទិំសុ ។ អថខោ អាយស្មា ធនិយោ កុម្ភការបុត្តោ តេ ភិក្ខូ ឯតទវោច កិស្ស មេ តុម្ហេ អាវុសោ កុដិកំ ភិន្ទថាតិ ។ ភគវា អាវុសោ ភេទាបេតីតិ ។ ភិន្ទថាវុសោ សចេ ធម្មសាមី ភេទាបេតីតិ ។

១ ម. បាតព្យំ ។ ឆំ សត្តពិភាសា ។



មិនគប្បី មិនគួរធ្វើឡើយ ម្នាលភិក្ខុទាំងឡាយ ចុះហេតុដូចម្តេចក៏បានជាមោឃបុរសនោះជាន់ដីដោយខ្លួនឯង ហើយធ្វើកុដិសុទ្ធដោយដីទាំងអស់ (ដូច្នោះ) ម្នាលភិក្ខុទាំងឡាយ សេចក្តីករុណា សេចក្តីអនុគ្រោះ និងសេចក្តីមិនបៀតបៀនដល់ពួកសត្វមានជីវិត ទំនងជាមិនមានដល់មោឃបុរសនោះទេដឹង ម្នាលភិក្ខុទាំងឡាយ ចូរអ្នកទាំងឡាយទៅទំលាយកុដិនោះចេញ កុំឲ្យបណ្តាជនជាខាងក្រោយបៀតបៀនបំផ្លាញដល់បាណជាតិទៀតឡើយ ម្នាលភិក្ខុទាំងឡាយ ភិក្ខុមិនត្រូវធ្វើកុដិឲ្យសុទ្ធដោយដីទាំងអស់ទេ បើភិក្ខុណាធ្វើ ភិក្ខុនោះត្រូវអាបត្តិទុក្កដ ។ ភិក្ខុទាំងនោះទទួលព្រះពុទ្ធដីកាថា បពិត្រព្រះអង្គដ៏ចំរើន យ៉ាងនេះរួចហើយ កុដិនោះនៅត្រង់ណា ក៏នាំគ្នាចូលទៅត្រង់ទីនោះ លុះចូលទៅដល់ហើយ ក៏វាយបំបាក់កុដិនោះទៅ ។ គ្រានោះ ធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំង សួរភិក្ខុទាំងនោះថា នែលោកទាំងឡាយ ចុះហេតុអ្វីបានជាលោកនាំគ្នាមកវាយបំបាក់កុដិខ្ញុំដូច្នេះ ។ ភិក្ខុទាំងនោះឆ្លើយថា ម្នាលអាវុសោ ព្រះដ៏មានព្រះភាគជាម្ចាស់ទ្រង់ត្រាស់ឲ្យវាយបំបាក់ ។ ធនិយភិក្ខុឆ្លើយតបថា អើ លោកដ៏មានអាយុទាំងឡាយ បើព្រះដ៏មានព្រះភាគជាធម្មសាមីទ្រង់ត្រាស់ឲ្យវាយបំបាក់ និមន្តវាយបំបាក់ចុះ ។

(៨០) អថខោ អាយស្មតោ ធនិយស្ស កុម្ភការបុត្តស្ស ឯតទហោសិ យាវតតិយកំ ខោ មេ គាមំ បិណ្ឌាយ បវិដ្ឋស្ស តិណហារិយោ កដ្ឋហារិយោ តិណកុដិកំ ភិន្ទិត្វា តិណញ្ច កដ្ឋញ្ច អាហរិំសុ យាបិ មយា សព្វមត្តិកាមយា កុដិកា កាតា សាបិ ភគវតា ភេទាបិតា អត្ថិ ច មេ ទារុគហេគណកោ សន្ទិដ្ឋោ យន្នូនាហំ ទារុគហេគណកំ ទារូនិ យាចិត្វា ទារុកុដិកំ ករេយ្យន្តិ ។ អថខោ អាយស្មា ធនិយោ កុម្ភការបុត្តោ យេន ទារុគហេគណកោ តេនុបសង្កមិ ឧបសង្កមិត្វា ទារុគហេគណកំ ឯតទវោច យាវតតិយកំ ខោ មេ អាវុសោ គាមំ បិណ្ឌាយ បវិដ្ឋស្ស តិណហារិយោ កដ្ឋហារិយោ តិណកុដិកំ ភិន្ទិត្វា តិណញ្ច កដ្ឋញ្ច អាហរិំសុ យាបិ មយា សព្វមត្តិកាមយា កុដិកា កាតា សាបិ



(៨០) លំដាប់នោះ ធនិយភិក្ខុដ៏មានអាយុជាកុម្ភការបុត្រ មានសេចក្តីត្រិះរិះថា កាលដែលអាត្មាចូលទៅបិណ្ឌបាតក្នុងស្រុក មានពួកអ្នករកស្មៅនិងពួកអ្នករកអុសមករុះកុដិដែលប្រក់ដោយស្មៅ ហើយដឹកនាំយកស្មៅនិងឈើទៅអស់ ដរាបអស់វារៈបីដង កុដិដែលអាត្មាធ្វើហើយឲ្យសុទ្ធតែដោយដីទាំងអស់នោះ ព្រះដ៏មានព្រះភាគជាម្ចាស់ត្រាស់ប្រើឲ្យភិក្ខុទាំងឡាយបំបាក់ចេញអស់ មានបុរសអ្នកកាន់កាប់ថែរក្សាឈើក្នុងឃ្លាំង(១) ហ្លួង (១ នាក់) អាត្មាធ្លាប់ស្គាល់ដែរ បើដូច្នោះមានតែអាត្មាត្រូវសុំឈើនឹងអ្នកដែលកាន់កាប់ថែរក្សាឈើក្នុងឃ្លាំងរបស់ស្ដេច ហើយធ្វើកុដិដោយឈើវិញ ។ លំដាប់នោះ ធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំងក៏ចូលទៅរកអ្នកកាន់កាប់ថែរក្សាឈើក្នុងឃ្លាំងរបស់ស្ដេច លុះចូលទៅដល់ហើយ ក៏និយាយនឹងអ្នកកាន់កាប់ថែរក្សាឈើក្នុងឃ្លាំងរបស់ស្ដេចនោះថា ម្នាលអ្នកដ៏មានអាយុ កាលអាត្មាចូលទៅបិណ្ឌបាតក្នុងស្រុក មានពួកអ្នករកស្មៅនិងពួកអ្នករកអុសមករុះកុដិដែលប្រក់ដោយស្មៅហើយដឹកនាំយកស្មៅនិងឈើទៅអស់ (តែដូច្នេះឯង) អស់វារៈបីដងហើយ កុដិដែលអាត្មាធ្វើហើយឲ្យសុទ្ធតែដោយដីទាំងអស់ នោះ

១ ទីនេះ បើនឹងប្រែថា នាយស្មៀន តែតាមន័យក្នុងអដ្ឋកថា ប្រែថា អ្នកកាន់កាប់ថែរក្សាឈើក្នុងឃ្លាំងឈើរបស់ស្ដេច (នាយឃ្លាំងឈើ) ។

គណកំ ឯតទវោច ទេហិ មេ អាវុសោ ទារូនិ ឥច្ឆាមិ ទារុកុដិកំ កាតុន្តិ ។ នត្ថិ ភន្តេ តាទិសានិ ទារូនិ យានិ អយ្យស្ស ទទេយ្យំ អត្ថិ ភន្តេ ទេវគហទារូនិ[1] នគរប្បដិសង្ខារិកានិ អាបទត្ថាយ និក្ខិត្តានិ សចេ តានិ រាជា ទាបេតិ ហរាបេថ ភន្តេតិ ។ ទិន្នានិ អាវុសោ រញ្ញាតិ ។ អថខោ ទារុគហេគណកោ ឥមេ ខោ សមណា សក្យបុត្តិយា ធម្មចារិនោ សមចារិនោ ព្រហ្មចារិនោ សច្ចវាទិនោ សីលវន្តោ កល្យាណធម្មា រាជាបិមេសំ អភិប្បសន្នោ ន អរហតិ អទិន្នំ ទិន្នន្តិ វត្តុន្តិ អាយស្មន្តំ ធនិយំ កុម្ភការបុត្តំ ឯតទវោច ហរាបេថ ភន្តេតិ[2] ។ អថខោ អាយស្មា ធនិយោ កុម្ភការបុត្តោ តានិ ទារូនិ ខណ្ឌាខណ្ឌិកំ ឆេទាបេត្វា សកដេហិ និព្វាហាបេត្វា ទារុកុដិកំ អកាសិ ។

---

១ ម. យ. ក. ទេវគហទារូនិ ។ ២ តេសុ [illegible] វិសទិសតា ហោតិ ។ តត្ថ ហិ ឯវំ វុត្តំ អថខោ ទារុគហេគណកស្ស ឯតទហោសិ ឥមេ ខោ សមណា សក្យបុត្តិយា ។ បេ ។ ទិន្នន្តិ វត្តុន្តិ ។ អថខោ ទារុគហេគណកោ អាយស្មន្តំ ធនិយំ កុម្ភការបុត្តំ ឯ-តទវោច ហរាបេថ ភន្តេតិ ។



ព្រះថេរមានព្រះការទ្រង់ត្រាស់ប្រើឲ្យភិក្ខុកាប់បំបាក់បំបែកចេញអស់ នែអ្នកដ៏មានអាយុ ចូរអ្នកប្រគេនឈើមកអាត្មា ។ ចង់ធ្វើកុដិឈើ ។ អ្នកកាន់កាប់ថែរក្សាឈើក្នុងឃ្លាំងរបស់ស្តេចឆ្លើយថា បពិត្រលោកដ៏ចំរើន ឈើដែលទំហំណាល្មមគួរនឹងប្រគេនលោកម្ចាស់នោះគ្មានទេ មានតែឈើព្រះរាជទ្រព្យ សម្រាប់ជួសជុលព្រះនគរ ដែលទុកប្រយោជន៍ការការអន្តរាយលោកម្ចាស់ បើព្រះរាជាទ្រង់ត្រាស់ឲ្យប្រគេន ([illegible]) លោកម្ចាស់ឲ្យគេមកនាំយកទៅចុះ ។ ធនិយភិក្ខុឆ្លើយថា ម្នាលអាវុសោ ស្តេចប្រគេនហើយតើ ។ លំដាប់នោះ អ្នកកាន់កាប់ថែរក្សាឈើក្នុងឃ្លាំងរបស់ស្តេចគិតថា សមណទាំងនេះជាសក្យបុត្ត ជាអ្នកប្រព្រឹត្តធម៌ មានសេចក្តីប្រព្រឹត្តស្មើជាប្រក្រតី មានកិរិយាប្រព្រឹត្តធម៌ដ៏ប្រសើរ លោកនិយាយតែពាក្យពិត លោកជាអ្នកមានសីលនិងមានធម៌ល្អ សូម្បីស្តេចក៏ជ្រះថ្លានឹងសមណទាំងនេះពេញចិត្ត (បើដូច្នេះ) របស់ដែលគេមិនបានឲ្យ លោកមិនគួរនឹងនិយាយថាគេឲ្យទេ (ស្តេចគង់ជូនហើយ) ក៏និយាយនឹងធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំងថា បពិត្រលោកដ៏ចំរើន លោកម្ចាស់ឲ្យគេមកនាំយកឈើនោះទៅចុះ ។ គ្រានោះ ធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំងឲ្យមនុស្សកាត់ឈើនោះជាកំណាត់តូចកំណាត់ធំ ហើយឲ្យដឹកនាំយកទៅដោយរទេះទាំងឡាយ ហើយបានតាក់តែងធ្វើកុដិឈើ ។

(៨៤) អថខោ វស្សការោ ព្រាហ្មណោ មគធមហាមត្តោ រាជគហេ កម្មន្តេ អនុសញ្ញាយមានោ យេន ទារុគហេ គណកោ តេនុបសង្កមិ ឧបសង្កមិត្វា ទារុគហេ គណកំ ឯតទវោច យានិ តានិ ភណេ ទេវគហទារូនិ នគរប្បដិសង្ខារិកានិ អាបទត្ថាយ និក្ខិត្តានិ កហំ តានិ ទារូនីតិ ។ តានិ សាមិ ទារូនិ ទេវេន អយ្យស្ស ធនិយស្ស កុម្ភការបុត្តស្ស ទិន្នានីតិ ។ អថខោ វស្សការោ ព្រាហ្មណោ មគធមហាមត្តោ អនត្តមនោ អហោសិ កថំ ហិ នាម ទេវោ ទេវគហទារូនិ នគរប្បដិសង្ខារិកានិ អាបទត្ថាយ និក្ខិត្តានិ ធនិយស្ស កុម្ភការបុត្តស្ស ទស្សតីតិ ។ អថខោ វស្សការោ ព្រាហ្មណោ មគធមហាមត្តោ យេន រាជា មាគធោ សេនិយោ ពិម្ពិសារោ តេនុបសង្កមិ ឧបសង្កមិត្វា រាជានំ មាគធំ សេនិយំ ពិម្ពិសារំ ឯតទវោច សច្ចំ កិរ[1] ទេវេន ទេវគហទារូនិ នគរប្បដិសង្ខារិកានិ អាបទត្ថាយ និក្ខិត្តានិ ធនិយស្ស កុម្ភការបុត្តស្ស ទិន្នានីតិ ។ កោ ឯវមាហាតិ ។



(៨៤) គ្រានោះ វស្សការព្រាហ្មណ៍ជាមហាមាត្យក្នុងដែនមគធៈ កាលដើរពិនិត្យត្រួតត្រាមើលការងារក្នុងក្រុងរាជគ្រឹះ ក៏ចូលទៅរកអ្នកកាន់កាប់ថែរក្សាឈើក្នុងឃ្លាំងរបស់ស្តេច លុះចូលទៅដល់ហើយ ក៏និយាយនឹងអ្នកកាន់កាប់ថែរក្សាឈើក្នុងឃ្លាំងរបស់ស្តេចនោះថា នែនាយ ឈើព្រះរាជទ្រព្យឯណា សម្រាប់ជួសជុលព្រះនគរ ដែលទុកប្រយោជន៍ការពារអន្តរាយ ឈើនោះនៅឯណា ។ អ្នកកាន់កាប់ថែរក្សាឈើក្នុងឃ្លាំងរបស់ស្តេចឆ្លើយថា បពិត្រលោកជាម្ចាស់ ឈើនោះស្តេចបានប្រគេនទៅធនិយភិក្ខុជាម្ចាស់ជាកូនស្មូនឆ្នាំងហើយ ។ លំដាប់នោះ វស្សការព្រាហ្មណ៍ជាមហាមាត្យក្នុងដែនមគធៈមានសេចក្តីតូចចិត្ត (ដោយគិត) ថា ចុះហេតុអ្វីក៏បានជាស្តេចប្រគេនឈើព្រះរាជទ្រព្យសម្រាប់ជួសជុលព្រះនគរ ដែលទុកប្រយោជន៍ការពារអន្តរាយទៅធនិយភិក្ខុជាកូនស្មូនឆ្នាំងវិញ ។ គ្រានោះ វស្សការព្រាហ្មណ៍ជាមហាមាត្យក្នុងដែនមគធៈ ចូលទៅក្នុងទីដែលព្រះបាទពិម្ពិសារមាគធសេនិយរាជគង់នៅ លុះចូលទៅដល់ហើយក៏ក្រាបទូលថា បានឮថា ឈើព្រះរាជទ្រព្យសម្រាប់ជួសជុលព្រះនគរ ដែលទុកប្រយោជន៍ការពារអន្តរាយ ព្រះអង្គទ្រង់ប្រគេនទៅធនិយភិក្ខុមែនឬ ។ ព្រះបាទពិម្ពិសារត្រាស់ថា អ្នកណានិយាយយ៉ាងនេះ ។

ទារុគហគណកោ ភណតិ ។ តេនហិ ព្រាហ្មណ ទារុគហគណកំ អាណាបេហីតិ ។ អថខោ វស្សការោ ព្រាហ្មណោ មគធមហាមត្តោ ទារុគហគណកំ ពន្ធំ អាណាបេសិ ។

(៨៦) អទ្ទសា ខោ អាយស្មា ធនិយោ កុម្ភការបុត្តោ ទារុគហគណកំ ពន្ធំ នីយមានំ[១] ទិស្វាន ទារុគហគណកំ ឯតទវោច កិស្ស ត្វំ អាវុសោ ពន្ធោ នីយសីតិ[២] ។ តេសំ ភន្តេ ទារូនំ កិច្ចាតិ ។ គច្ឆាវុសោ អហំបិ គច្ឆាមីតិ ។ ឯយ្យាសិ ភន្តេ បុរាហំ ហញ្ញាមីតិ ។ អថខោ អាយស្មា ធនិយោ កុម្ភការបុត្តោ យេន រញ្ញោ មាគធស្ស សេនិយស្ស ពិម្ពិសារស្ស និវេសនំ តេនុបសង្កមិ ឧបសង្កមិត្វា បញ្ញត្តេ អាសនេ និសីទិ ។ អថខោ រាជា មាគធោ សេនិយោ ពិម្ពិសារោ យេនាយស្មា ធនិយោ កុម្ភការបុត្តោ តេនុបសង្កមិ

១ ឱ. ម. និយ្យមានំ ។ ២ ឱ. ម. និយ្យសីតិ ។



មហាមាត្យឆ្លើយថា បពិត្រព្រះសម្មតិទេព អ្នកកាន់កាប់ថែរក្សាឈើ ។ ព្រះបាទពិម្ពិសារទ្រង់មានព្រះបន្ទូលថា ម្នាលព្រាហ្មណ៍ បើដូច្នោះ អ្នកឯងចូរឲ្យមនុស្សទៅចាប់អ្នកកាន់កាប់ថែរក្សាឈើមកមើល ។ លំដាប់នោះ វស្សការព្រាហ្មណ៍ជាមហាមាត្យក្នុងដែនមគធៈ ក៏ឲ្យមនុស្សទៅចាប់ចងអ្នកកាន់កាប់ថែរក្សាឈើហើយនាំមក ។

(៨៦) ធនិយភិក្ខុដ៏មានអាយុជាកូនរបស់ជាងឆ្នាំង បានឃើញអ្នកកាន់កាប់ថែរក្សាឈើ ដែលគេចងហើយគេកំពុងនាំយកទៅ លុះឃើញហើយ ក៏សួរអ្នកកាន់កាប់ថែរក្សាឈើនោះថា ចុះហេតុអ្វីអាវុសោ ចុះជាអ្នកត្រូវគេចងនាំយកទៅដូច្នេះ ។ អ្នកកាន់កាប់ថែរក្សាឈើឆ្លើយថា បពិត្រលោកដ៏ចំរើន ព្រោះរឿងឈើនោះ ។ ធនិយភិក្ខុឆ្លើយថា អាវុសោ អ្នកទៅចុះ អាត្មានឹងទៅដែរ ។ អ្នកកាន់កាប់ថែរក្សាឈើឆ្លើយថា លោកម្ចាស់គួរមក ខ្ញុំព្រះករុណាលំបាកមុនហើយ ។ លំដាប់នោះ ធនិយភិក្ខុ ដ៏មានអាយុជាកុម្ភការបុត្រ ក៏ចូលទៅកាន់ព្រះរាជដំណាក់ នៃព្រះបាទពិម្ពិសារមាគធសេនិយរាជ លុះចូលទៅដល់ហើយ ក៏គង់លើអាសនៈដែលគេបានក្រាលប្រគេន ។ វេលានោះ ព្រះបាទពិម្ពិសារមាគធសេនិយរាជ ក៏ចូលទៅត្រង់កន្លែងដែលធនិយភិក្ខុដ៏មានអាយុ

ឧបសង្កមិត្វា អាយស្មន្តំ ធនិយំ កុម្ភការបុត្តំ អភិវាទេត្វា ឯកមន្តំ និសីទិ ។ ឯកមន្តំ និសិន្នោ ខោ រាជា មាគធោ សេនិយោ ពិម្ពិសារោ អាយស្មន្តំ ធនិយំ កុម្ភការបុត្តំ ឯតទវោច សច្ចំ កិរ មយា ភន្តេ ទេវគហទារូនិ នគរប្បដិសង្ខារិកានិ អាបទត្ថាយ និក្ខិត្តានិ អយ្យស្ស ទិន្នានីតិ ។ ឯវំ មហារាជាតិ ។ មយំ ខោ ភន្តេ រាជានោ នាម ពហុកិច្ចា ពហុករណីយា ទត្វាបិ ន សរេយ្យាម ឥង្ឃ ភន្តេ សរាបេហីតិ ។ សរសិ ត្វំ មហារាជ បឋមាភិសិត្តោ ឯវរូបឹ វាចំ ភាសិតា ទិន្នញ្ញេវ សមណព្រាហ្មណានំ តិណកដ្ឋោទកំ បរិភុញ្ជន្តូតិ ។ សរាមហំ ភន្តេ សន្តិ ភន្តេ សមណព្រាហ្មណា លជ្ជិនោ កុក្កុច្ចកា សិក្ខាកាមា តេសំ អប្បមត្តកេបិ កុក្កុច្ចំ ឧប្បជ្ជតិ



ជាកុម្ភការបុត្រគង់នៅ លុះចូលទៅដល់ហើយក៏ថ្វាយបង្គំចំពោះធនិយភិក្ខុ ដ៏មានអាយុជាកុម្ភការបុត្រ ហើយគង់នៅក្នុងទីដ៏សមគួរ ។ លុះព្រះបាទពិម្ពិសារមគធរាជ គង់ក្នុងទីដ៏សមគួរហើយ ទើបទ្រង់មានព្រះបន្ទូលសួរធនិយភិក្ខុដ៏មានអាយុជាកុម្ភការបុត្រនោះថា បពិត្រលោកដ៏ចំរើន បានឮថា ឈើព្រះរាជទ្រព្យសម្រាប់ជួសជុលព្រះនគរ ដែលទុកបម្រុងការភ័យអន្តរាយ ខ្ញុំបានប្រគេនលោកពិតមែនឬ ។ ធនិយភិក្ខុទូលថា ថ្វាយព្រះពរមហារាជ ពិតមែន ។ ព្រះបាទពិម្ពិសារទ្រង់មានព្រះបន្ទូលថា បពិត្រលោកដ៏ចំរើន ធម្មតាយើងជាស្ដេចមានកិច្ចច្រើន ការកិច្ចដែលត្រូវធ្វើក៏មានច្រើន បើទុកជាយើងឲ្យមែន ក៏នឹកមិនឃើញដែរ ហេតុនេះសូមលោករំលឹកខ្ញុំផង ។ ធនិយភិក្ខុទូលថា ថ្វាយព្រះពរមហារាជ សូមព្រះអង្គទ្រង់ពិនិត្យមើល កាលដែលទ្រង់ទើបបានរាជាភិសេកនោះ ទ្រង់មានព្រះបន្ទូល មានសភាពយ៉ាងនេះថា ស្មៅ ឈើ និងទឹក ខ្ញុំបានឲ្យហើយ ដល់សមណព្រាហ្មណ៍ទាំងឡាយ ៗ ចូរប្រើប្រាស់ (នូវស្មៅ ឈើនិងទឹកនោះចុះ) ។ ព្រះបាទពិម្ពិសារមានព្រះបន្ទូលថា បពិត្រលោកដ៏ចំរើន ខ្ញុំនឹកឃើញហើយ (ប៉ុន្តែថា) សមណព្រាហ្មណ៍ទាំងឡាយ ដែលមានសេចក្ដីអៀនខ្មាស សេចក្ដីសង្ស័យ និងមានសេចក្ដីប្រាថ្នាក្នុងសិក្ខា សមណព្រាហ្មណ៍ទាំងនោះ រមែងកើតមានសេចក្ដីសង្ស័យ

តេសំ មយា សន្ធាយ ភាសិតំ តញ្ច ខោ អរញ្ញេ អបរិគ្គហិតំ សោ ត្វំ ភន្តេ តេន លេសេន ទារូនិ អទិន្នំ ហរិតុំ មញ្ញសិ កថំ ហិ នាម មាទិសោ សមណំ វា ព្រាហ្មណំ វា ឃាតេយ្យ វា ពន្ធេយ្យ វា បព្វាជេយ្យ វា(១) គច្ឆ ភន្តេ លោមេន ត្វំ មុត្តោសិ មា បុនបិ ឯវរូបំ អកាសីតិ ។

[៨៣] មនុស្សា ឧជ្ឈាយន្តិ ខីយន្តិ(២) វិបាចេន្តិ អលជ្ជិនោ ឥមេ សមណា សក្យបុត្តិយា ទុស្សីលា មុសាវាទិនោ ឥមេ ហិ នាម ធម្មចារិនោ សមចារិនោ ព្រហ្មចារិនោ សច្ចវាទិនោ សីលវន្តោ កល្យាណធម្មា បដិជានិស្សន្តិ នត្ថិ ឥមេសំ សាមញ្ញំ នត្ថិ ឥមេសំ ព្រហ្មញ្ញំ នដ្ឋំ ឥមេសំ សាមញ្ញំ នដ្ឋំ ឥមេសំ ព្រហ្មញ្ញំ កុតោ ឥមេសំ សាមញ្ញំ កុតោ ឥមេសំ ព្រហ្មញ្ញំ

១ ឱរោបិយមរម្មពោត្ថកេសុ កថំ ហិ នាម មាទិសោ សមណំ វា ព្រាហ្មណំ វា វិជិតេ វសន្តំ ហនេយ្យ វា ពន្ធេយ្យ វា បព្វាជេយ្យ វាតិ ឯកាវិបរិលេន បយោគោ ភវតិ ។ ២ យេភុយ្យេន ខិយន្តីតិ បាឋោ ។



ក្នុងហេតុនីមួយសូម្បីតែបន្តិចបន្តួច ស្មៅ ឈើ និងទឹក ដែលខ្ញុំនិយាយថា ឲ្យនោះគឺឲ្យចំពោះសមណនិងព្រាហ្មណ៍ទាំងនោះ ព្រោះថាស្មៅឈើនិងទឹកនោះឯង ដែលមានក្នុងព្រៃគ្មានអ្នកណាហួងហែងឡើយ បពិត្រលោកដ៏ចំរើន លោកសំគាល់ការដោយហេតុបន្តិចបន្តួចនោះ ដើម្បីនាំយកឈើដែលគេមិនបានឲ្យយ៉ាងនេះ មនុស្សទាំងឡាយប្រហែលដូចខ្ញុំ នឹងសំឡាប់ ឬចង ឬបំបរបង់ នូវសមណឬព្រាហ្មណ៍ ដូចម្តេចកើត បពិត្រលោកដ៏ចំរើន សូមលោកនិមន្តទៅចុះ លោករួច (ទោស) ហើយ ដោយសាររោម (គឺភេទនៃបព្វជិត) លោកកុំធ្វើយ៉ាងនេះទៀតឡើយ ។

[៨៣] មនុស្សទាំងឡាយពោលទោស តិះដៀល បន្តុះបង្អាប់ថា សមណជាសក្យបុត្តទាំងនេះគ្មានសេចក្តីអៀនខ្មាស ជាអ្នកទ្រុស្តសីល និយាយកុហក តួណាស់តែសមណទាំងនេះប្រព្រឹត្តនូវធម៌ មានសេចក្តីប្រព្រឹត្តស្មើជាប្រក្រតី និងប្រព្រឹត្តនូវធម៌ដ៏ប្រសើរ និយាយទៀងត្រង់ មានសីលនិងមានធម៌ល្អ ទើបនឹងប្តេជ្ញា (ខ្លួនជាសមណបាន) ភាពនៃសមណរបស់លោកទាំងនេះគ្មានទេ ភាពនៃធម៌ដ៏ប្រសើររបស់លោកទាំងនេះគ្មានទេ សាមញ្ញគុណរបស់លោកទាំងនេះវិនាសអស់ហើយ ព្រហ្មញ្ញគុណរបស់លោកទាំងនេះវិនាសអស់ហើយ សាមញ្ញគុណរបស់លោកទាំងនេះនឹងមានមកអំពីណា ព្រហ្មញ្ញគុណរបស់លោកទាំងនេះ

អបគតា ឥមេ សាមញ្ញា អបគតា ឥមេ ព្រហ្មញ្ញា រាជានំបិ ឥមេ វញ្ចេន្តិ កឹ បន អញ្ញេ មនុស្សេតិ ។ អស្សោសុំ ខោ ភិក្ខូ តេសំ មនុស្សានំ ឧជ្ឈាយន្តានំ ខីយន្តានំ[១] វិបាចេន្តានំ ។ យេ តេ ភិក្ខូ អប្បិច្ឆា សន្តុដ្ឋា លជ្ជិនោ កុក្កុច្ចកា សិក្ខាកាមា តេ ឧជ្ឈាយន្តិ ខីយន្តិ វិបាចេន្តិ កថំ ហិ នាម អាយស្មា ធនិយោ កុម្ភការបុត្តោ រញ្ញោ ទារូនិ អទិន្នំ អាទិយិស្សតីតិ ។ អថខោ តេ ភិក្ខូ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អថខោ ភគវា ឯតស្មឹ និទានេ ឯតស្មឹ បករណេ ភិក្ខុសង្ឃំ សន្និបាតាបេត្វា អាយស្មន្តំ ធនិយំ កុម្ភ-ការបុត្តំ បដិបុច្ឆិ សច្ចំ កិរ ត្វំ ធនិយ រញ្ញោ ទារូនិ អទិន្នំ អាទិយសីតិ[២] ។ សច្ចំ ភគវាតិ ។ វិគរហិ ពុទ្ធោ ភគវា អននុច្ឆវិកំ មោឃបុរិស អននុលោមិ-កំ អប្បដិរូបំ អស្សាមណកំ អកប្បិយំ អករណីយំ

១ យោគ្យយេន វិយ្យត្តន្តិ បឋន្តិ ។ ២ ម. អាទិយតិ ។



ទីទីមានមកអំពីឯណា លោកចាំនេះព្រាត់ហើយចាកសាមញ្ញគុណ លោកចាំនេះព្រាត់ហើយចាកព្រហ្មញ្ញគុណ សមណៈចាំនេះហិនបញ្ឆោតដល់ស្តេចផែនដី ចំណាន់បើមនុស្សឯទៀតយកទីណាទៅនេះ ។ ភិក្ខុចាំនេះឡាយបានឮមនុស្សចាំនេះនោះពោលទោស តិះដៀល បន្តុះបង្អាប់ដូច្នេះហើយ ។ ពួកភិក្ខុឯណាមានសេចក្តីប្រាថ្នាតិច ជាអ្នកសន្តោស អ្នកខ្មាស មានសេចក្តីរង្កៀស មានប្រាថ្នាក្នុងសិក្សា ភិក្ខុចាំនោះក៏ពោលទោស តិះដៀល បន្តុះបង្អាប់ថា ចុះហេតុអ្វីបានជាធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំងទៅយករបស់ដែលគេមិនបានឲ្យ គឺឈើរបស់ស្តេច (ដូច្នោះ) ។ គ្រានោះ ភិក្ខុចាំនោះក្រាបបង្គំទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ គ្រោះនិទាននេះ ដំណើរនេះ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ឲ្យប្រជុំភិក្ខុសង្ឃ ហើយសួរចំពោះធនិយភិក្ខុដ៏មានអាយុជាកូនស្មូនឆ្នាំងក្នុងវេលានោះថា ធនិយភិក្ខុ ឮថា អ្នកឯងបានយករបស់ដែលគេមិនបានឲ្យ គឺឈើរបស់ព្រះរាជា មែនឬ ។ ធនិយភិក្ខុឆ្លើយថា បពិត្រព្រះដ៏មានព្រះភាគ ការនោះពិតមែន ។ ព្រះសម្មាសម្ពុទ្ធដ៏មានព្រះភាគទ្រង់តិះដៀលធនិយភិក្ខុថា នែមោឃបុរស កម្មនេះជាកម្មមិនសមគួរ មិនត្រូវទំនង មិនត្រូវបែបផែន មិនមែនជារបស់សមណៈ មិនគប្បី មិនគួរ

កថំ ហិ នាម ត្វំ មោឃបុរិស រញ្ញោ ទារូនិ អទិន្នំ អាទិយិស្សសិ នេតំ មោឃបុរិស អប្ប-សន្នានំ វា បសាទាយ បសន្នានំ វា ភិយ្យោភាវាយ អថខ្វេតំ មោឃបុរិស អប្បសន្នានញ្ចេវ អប្បសាទាយ បសន្នានញ្ច ឯកច្ចានំ អញ្ញថត្តាយាតិ ។ តេន ខោ បន សមយេន អញ្ញតរោ បុរាណវោហារិកោ មហា-មត្តោ ភិក្ខូសុ បព្វជិតោ ភគវតោ អវិទូរេ និសិន្នោ ហោតិ ។ អថខោ ភគវា តំ ភិក្ខុំ ឯតទវោច កិត្ត-កេន ខោ ភិក្ខុ រាជា មាគធោ សេនិយោ ពិម្ពិ-សារោ ចោរំ គហេត្វា ហនតិ វា ពន្ធតិ វា បព្វាជេតិ វាតិ ។ បាទេន វា ភគវា បាទារហេន វា អតិរេក-បាទេន វាតិ ។ តេន ខោ បន សមយេន រាជគហេ បញ្ចមាសកោ បាទោ ហោតិ ។ អថខោ ភគវា អាយ-ស្មន្តំ ធនិយំ កុម្ភការបុត្តំ អនេកបរិយាយេន វិគរហិត្វា



ធ្វើឡើយ នែមោឃបុរស ហេតុអ្វីក៏បានជាអ្នកឯងទៅយករបស់ដែលគេមិនបានឲ្យ គឺឈើរបស់ព្រះរាជា (ដូច្នោះ) នែមោឃបុរស អំពើនេះមិនមែននាំឲ្យកើតសេចក្ដីជ្រះថ្លាដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លា ទាំងមិនមែននាំឲ្យរឹតតែជ្រះថ្លាដល់ជនទាំងឡាយដែលជ្រះថ្លាស្រាប់នោះទេ នែមោឃបុរស អំពើនេះប្រាកដជានាំបណ្ដាលមនុស្សពួកខ្លះ ដែលមិនទាន់ជ្រះថ្លាឲ្យខានមានសេចក្ដីជ្រះថ្លា នឹងនាំបណ្ដាលមនុស្សពួកខ្លះដែលជ្រះថ្លាហើយ ឲ្យបាក់ជ្រះថ្លាទៅវិញ ។ សម័យនោះ មានមហាមាត្យម្នាក់ ពីដើមធ្លាប់ធ្វើជាចៅក្រមចាស់ បានបួសក្នុងសំណាក់ពួកភិក្ខុ (ភិក្ខុនោះឯង) បានទៅអង្គុយជិតព្រះដ៏មានព្រះភាគ ។ វេលានោះ ព្រះអង្គទ្រង់មានព្រះបន្ទូលសួរភិក្ខុនោះថា ម្នាលភិក្ខុ ព្រះបាទពិម្ពិសារមាគធសេនិយរាជចាប់ចោរបានហើយ សម្លាប់ក្ដី ឃុំខាំងក្ដី និរទេសក្ដី ដោយរបស់មានតម្លៃប៉ុន្មាន ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ដោយរបស់មានតម្លៃចំនួន ១ បាទ ឬគួរដល់ ១ បាទ ឬច្រើនជាង ១ បាទ ។ សម័យនោះឯង ក្នុងក្រុងរាជគ្រឹះ គេចាយប្រាក់ ៥ មាសកជា ១ បាទ ។ គ្រានោះ ព្រះដ៏មានព្រះភាគ ទ្រង់តិះដៀលធនិយភិក្ខុដែលមានអាយុជាកូនស្មូនឆ្នាំង ដោយអនេកបរិយាយ

ធុតតាយ ។ បេ ។ វីរិយារម្ភស្ស វណ្ណំ ភាសិត្វា ភិក្ខូនំ តទនុច្ឆវិកំ តទនុលោមិកំ ធម្មឹ កថំ កត្វា ភិក្ខូ អាមន្តេសិ ។ បេ ។ ឯវញ្ច បន ភិក្ខវេ ឥមំ សិក្ខាបទំ ឧទ្ទិសេយ្យាថ យោ បន ភិក្ខុ អទិន្នំ ថេយ្យសង្ខាតំ អាទិយេយ្យ យថារូបេ អទិន្នាទានេ រាជានោ ចោរំ គហេត្វា ហនេយ្យុំ វា ពន្ធេយ្យុំ វា បព្ពាជេយ្យុំ វា ចោរោសិ ពាលោសិ មូឡ្ហោសិ ថេនោសីតិ តថារូបំ ភិក្ខុ អទិន្នំ អាទិយមានោ អយម្បិ បារាជិកោ ហោតិ អសំវាសោតិ ។ ឯវញ្ចិទំ ភគវតា ភិក្ខូនំ សិក្ខាបទំ បញ្ញត្តំ ហោតិ ។

[៨៦] តេន ខោ បន សមយេន ឆព្ពគ្គិយា ភិក្ខូ រជកត្ថរណំ គន្ត្វា រជកភណ្ឌិកំ អវហរិត្វា អារាមំ អាហរិត្វា ភាជេសុំ ។ ភិក្ខូ ឯវមាហំសុ



ហើយទ្រង់សំដែងនូវទោសនៃការដែលគេពិបាកចិញ្ចឹម ។ បេ ។ ហើយទ្រង់ត្រាស់សរសើរគុណ នៃការប្រារព្ធព្យាយាម រួចទ្រង់សំដែងនូវធម្មីកថា ដ៏សមគួរដល់សិក្ខាបទនោះ ឲ្យមានទំនងតាមសិក្ខាបទនោះ ចំពោះភិក្ខុទាំងឡាយ ទើបទ្រង់ត្រាស់ហៅភិក្ខុទាំងឡាយមកជួបជុំ ។ បេ ។ ហើយទ្រង់បញ្ញត្តសិក្ខាបទថា ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយគប្បីសំដែងឡើងនូវសិក្ខាបទនេះយ៉ាងនេះថា ភិក្ខុណាមួយកាន់យកទ្រព្យដែលគេមិនបានឲ្យ ដោយចំណែកនៃចិត្តលួច ស្តេចទាំងឡាយចាប់បាននូវចោរ ហើយត្រូវសម្លាប់ក្តី ឃុំខាំងក្តី និរទេសក្តី ដោយពាក្យថា ឯងជាចោរ ជាមនុស្សពាលល្ងង់ ជាមនុស្សលួច ព្រោះអទិន្នាទានមានសភាពយ៉ាងណា ភិក្ខុកាលដែលកាន់យកទ្រព្យដែលគេមិនបានឲ្យមានសភាពដូច្នោះ ភិក្ខុនេះក្តី ក៏ត្រូវជាបារាជិក រកសំវាសគ្មាន. (គឺឥតមានកិរិយានៅរួបរួមគ្នាបាន) ។ សិក្ខាបទនេះព្រះដ៏មានព្រះភាគទ្រង់បានបញ្ញត្តហើយដល់ភិក្ខុទាំងឡាយយ៉ាងនេះ ។

(៨៦) សម័យនោះ ឆព្វគ្គិយភិក្ខុទាំងឡាយ នាំគ្នាទៅកាន់កំពង់របស់ជាងជ្រលក់ ហើយលួចយកបង្វិចសំពត់របស់ជាងជ្រលក់មកកាន់អារាមហើយចែកគ្នា ។ ភិក្ខុទាំងឡាយនិយាយយ៉ាងនេះថា

មហាបុញ្ញត្ថ តុម្ហេ អាវុសោ ពហុំ តុម្ហាកំ ចីវរំ ឧប្បន្នន្តិ ។ កុតោ អាវុសោ អម្ហាកំ បុញ្ញំ ឥទានិ មយំ រជកានំ តិត្ថេ រជកភណ្ឌិកំ អវហរិម្ហាតិ ។ ននុ អាវុសោ ភគវតា សិក្ខាបទំ បញ្ញត្តំ កិស្ស តុម្ហេ អាវុសោ រជកភណ្ឌិកំ អវហរិត្ថាតិ ។ សច្ចំ អាវុសោ ភគវតា សិក្ខាបទំ បញ្ញត្តំ តញ្ច ខោ គាមេ នោ អរញ្ញេតិ ។ ននុ អាវុសោ តថេវ តំ ហោតិ អននុច្ឆវិកំ អាវុសោ អននុលោមិកំ អប្បតិរូបំ អស្សាមណកំ អកប្បិយំ អករណីយំ កថំ ហិ នាម តុម្ហេ អាវុសោ រជកភណ្ឌិកំ អវហរិស្សថ នេតំ អាវុសោ អប្បសន្នានំ វា បសាទាយ បសន្នានំ វា ភិយ្យោភាវាយ



ម្នាលអាវុសោ លោកទាំងឡាយជាអ្នកមានបុណ្យច្រើន ចីវរកើតឡើងដល់លោកច្រើន ។ ពួកភិក្ខុនោះឆ្លើយថា ម្នាលអាវុសោ បុណ្យរបស់យើង មានមកពីណា អម្បាញ់មិញយើងទៅឯកំពង់របស់ជាងដែលគក់ ហើយយើងបានលួចយកបង្វិចសំពត់របស់ជាងដែលគក់មកទុកនេះ ។ ភិក្ខុទាំងឡាយនិយាយថា អាវុសោ សិក្ខាបទព្រះបរមគ្រូទ្រង់បញ្ញត្តហើយ ហើយតើ ដូចម្ដេចក៏បានជាលោកនាំគ្នាទៅលួចបង្វិចសំពត់របស់ជាងដែលគក់មក ។ ពួកភិក្ខុនោះតបថា ម្នាលអាវុសោ សិក្ខាបទព្រះបរមគ្រូជាម្ចាស់ទ្រង់បញ្ញត្តហើយក៏ពិតមែន តែថាសិក្ខាបទនោះ ទ្រង់បញ្ញត្តចំពោះតែក្នុងស្រុក ក្នុងព្រៃទ្រង់មិនបញ្ញត្តទេ ។ ភិក្ខុទាំងនោះនិយាយថា អាវុសោ សិក្ខាបទដែលព្រះអង្គទ្រង់បញ្ញត្តហើយក្នុងស្រុកនោះក៏ត្រូវដូចជាក្នុងព្រៃដូច្នោះដែរ មិនមែនឬ តែអាវុសោ អំពើដែលលោកធ្វើនេះ មិនសមគួរ មិនត្រូវទំនង មិនត្រូវបែបផែន មិនមែនជារបស់សមណៈ មិនគប្បី មិនគួរធ្វើឡើយ តែអាវុសោទាំងឡាយ ដូចម្ដេចក៏បានជាលោកនាំគ្នាទៅលួចបង្វិចសំពត់របស់ជាងដែលគក់មក ម្នាលអាវុសោ កម្មនេះមិនមែននាំឲ្យកើតសេចក្ដីជ្រះថ្លាដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លា ទាំងមិនមែននាំឲ្យរឹតតែកើតសេចក្ដីជ្រះថ្លាដល់ជនទាំងឡាយដែលមានសេចក្ដីជ្រះថ្លាហើយនោះទេ ម្នាលអាវុសោ

អដ្ឋិតំ អាវុសោ អប្បសន្នានញ្ចេវ អប្បសាទាយ ប-សន្នានញ្ច ឯកច្ចានំ អញ្ញថត្តាយាតិ ។ អថខោ តេ ភិក្ខូ ឆព្វគ្គិយេ ភិក្ខូ អនេកបរិយាយេន វិគរហិត្វា ភគវតោ ឯតមត្ថំ អារោចេសុំ ។ អថខោ ភគវា ឯតស្មឹ និទានេ ឯតស្មឹ បករណេ ភិក្ខុសង្ឃំ សន្និបាតាបេត្វា ឆព្វគ្គិ-យេ ភិក្ខូ បដិបុច្ឆិ សច្ចំ កិរ តុម្ហេ ភិក្ខវេ រជ-កត្ថរណំ គន្ត្វា រជកភណ្ឌិកំ អវហរិត្ថាតិ ។ សច្ចំ ភគវាតិ ។ វិគរហិ ពុទ្ធោ ភគវា អននុច្ឆវិកំ មោឃ-បុរិសា អននុលោមិកំ អប្បតិរូបំ អស្សាមណកំ អ-កប្បិយំ អករណីយំ កថំ ហិ នាម តុម្ហេ មោឃបុរិសា រជកភណ្ឌិកំ អវហរិស្សថ នេតំ មោឃបុរិសា អប្ប-សន្នានំ វា បសាទាយ ។ បេ ។ បសន្នានញ្ច ឯកច្ចានំ



ការនេះ ប្រាកដជាមិនបណ្ដាលឲ្យមនុស្សពួកខ្លះដែលមិនទាន់ជ្រះថ្លា ឲ្យបាន បានកើតសេចក្ដីជ្រះថ្លា នឹងនាំបណ្ដាលមនុស្សពួកខ្លះដែលជ្រះថ្លាហើយ ឲ្យត្រឡប់ជាកាយមាយាលោយបាត់សេចក្ដីជ្រះថ្លាទៅវិញ ។ គ្រានោះ ភិក្ខុទាំងឡាយនោះក៏តិះដៀលឆព្វគ្គិយភិក្ខុ ដោយអនេកបរិយាយហើយក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រោះនិទាននេះ ដំណើរនេះ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ឲ្យប្រជុំភិក្ខុសង្ឃ ហើយសួរចំពោះឆព្វគ្គិយភិក្ខុក្នុងវេលានោះថា ម្នាលភិក្ខុទាំងឡាយ បានឮថា ពួកអ្នកឯងនាំគ្នាទៅកាន់កន្ទេលដែលជាទីជ្រលក់គេលាត្រដាងសំពត់ ហើយបានលួចបង្វិចសំពត់របស់ជាងជ្រលក់មែនឬ ។ ឆព្វគ្គិយភិក្ខុទូលថា បពិត្រព្រះដ៏មានព្រះភាគ ពិតមែន ។ ព្រះដ៏មានព្រះភាគទ្រង់តិះដៀលឆព្វគ្គិយភិក្ខុថា នែមោឃបុរសទាំងឡាយ អំពើដែលពួកអ្នកឯងធ្វើនេះជាអំពើមិនសមគួរ មិនត្រូវទំនង មិនត្រូវបែបផែន មិនមែនជារបស់សមណ មិនគប្បី មិនគួរធ្វើឡើយ នែមោឃបុរសទាំងឡាយ ចុះហេតុអ្វីបានជាអ្នកនាំគ្នាទៅលួចបង្វិចសំពត់របស់ជាងជ្រលក់ នែមោឃ-បុរស អំពើនេះមិនមែននាំឲ្យកើតជ្រះថ្លាដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លានោះទេ ។ បេ ។ នឹងនាំបណ្ដាលឲ្យជនពួកខ្លះដែលជ្រះថ្លាហើយ

អញ្ញថត្តាយាតិ ។ អថខោ ភគវា ធនិយំ ភិក្ខុំ អនេកបរិយាយេន វិគរហិត្វា ទុព្ភរតាយ ។ បេ ។ វីរិយស្ស វណ្ណំ ភាសិត្វា ភិក្ខូនំ តទនុច្ឆវិកំ តទនុលោមិកំ ធម្មឹ កថំ កត្វា ភិក្ខូ អាមន្តេសិ ។ បេ ។ ឯវញ្ច បន ភិក្ខវេ ឥមំ សិក្ខាបទំ ឧទ្ទិសេយ្យាថ យោ បន ភិក្ខុ គាមា វា អរញ្ញា វា អទិន្នំ ថេយ្យសង្ខាតំ អាទិយេយ្យ យថារូបេ អទិន្នាទានេ រាជានោ ចោរំ គហេត្វា ហនេយ្យុំ វា ពន្ធេយ្យុំ វា បព្វាជេយ្យុំ វា ចោរោសិ ពាលោសិ មូឡ្ហោសិ ថេនោសីតិ តថារូបំ ភិក្ខុ អទិន្នំ អាទិយមានោ អយម្បិ បារាជិកោ ហោតិ អសំវាសោតិ ។



ត្រឡប់ចាកយមាយសាយបាត់សេចក្តីជ្រះថ្លាទៅវិញ ។ គ្រានោះ ព្រះដ៏មានព្រះភាគ ទ្រង់តិះដៀលធនិយភិក្ខុ ដោយព្រះពុទ្ធដីកាជាអនេកបរិយាយ ហើយទ្រង់សំដែងទោសនៃការដែលគេពិបាកចិញ្ចឹម ។ បេ ។ ទើបទ្រង់ត្រាស់សរសើរគុណនៃការប្រារព្ធព្យាយាម រួចហើយទ្រង់សំដែងនូវធម្មីកថា ដ៏សមគួរដល់សិក្ខាបទនោះ ។ ឲ្យមានទំនងតាមសិក្ខាបទនោះ ។ ចំពោះភិក្ខុទាំងឡាយ ទើបទ្រង់ត្រាស់ហៅភិក្ខុទាំងឡាយមកជួបជុំ ។ បេ ។ ហើយទ្រង់បញ្ញត្តសិក្ខាបទថា ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយគប្បីសំដែងឡើងនូវសិក្ខាបទនេះថា ភិក្ខុណាមួយកាន់យកទ្រព្យដែលគេមិនបានឲ្យ ដោយចំណែកនៃចិត្តលួច អំពីស្រុកក្តី ព្រៃក្តី ស្តេចទាំងឡាយចាប់បានចោរហើយ ត្រូវសម្លាប់ក្តី ឃុំឃាំងក្តី និរទេសក្តី ដោយពាក្យថា ឯងជាចោរ ជាមនុស្សពាលវង្វេង ជាមនុស្សលួច ព្រោះអទិន្នាទានមានសភាពយ៉ាងណា ភិក្ខុកាលដែលកាន់យកទ្រព្យដែលគេមិនបានឲ្យ មានសភាពយ៉ាងនោះ ភិក្ខុនេះក្តី ក៏ត្រូវអាបត្តិបារាជិក រកសំវាសគ្មាន (គឺឥតមានកិរិយានៅរួមគ្នាបាន) ។

(៨៨) យោ បនាតិ យោ យាទិសោ ។ បេ ។ ឯសោ វុច្ចតិ យោ បនាតិ ។ ភិក្ខូតិ ។ បេ ។ អយំ ឥមស្មឹ អត្ថេ អធិប្បេតោ ភិក្ខូតិ ។ គាមោ នាម ឯកកុដិកោបិ គាមោ ទ្វិកុដិកោបិ គាមោ តិកុដិកោបិ គាមោ ចតុក្កុដិកោបិ គាមោ សមនុស្សោបិ គាមោ អមនុស្សោបិ គាមោ បរិក្ខិត្តោបិ គាមោ អបរិក្ខិត្តោបិ គាមោ គោនិសាទនិវិដ្ឋោបិ គាមោ យោបិ សត្ថោ អតិរេកចតុម្មាសនិវិដ្ឋោ សោបិ វុច្ចតិ គាមោ ។ គាមូបចារោ នាម បរិក្ខិត្តស្ស គាមស្ស ឥន្ទខីលេ ឋិតស្ស មជ្ឈិមស្ស បុរិសស្ស លេឌ្ឌុបាតោ[១] អបរិក្ខិត្តស្ស គាមស្ស ឃរូបចារេ ឋិតស្ស មជ្ឈិមស្ស បុរិសស្ស លេឌ្ឌុបាតោ ។ អរញ្ញំ នាម ឋបេត្វា គាមញ្ច គាមូបចារញ្ច អវសេសំ អរញ្ញំ នាម ។ អទិន្នំ នាម យំ អទិន្នំ អនិស្សដ្ឋំ អបរិច្ចត្តំ រក្ខិតំ គោបិតំ

១ លេឌ្ឌុបាតោតិបិ បាឋោ ។



(៨៨) ត្រង់ពាក្យថា ណាមួយ សេចក្តីថា ឯណា ប្រាកដដូចជាឯណា ។ បេ ។ ភិក្ខុនេះ គប្បីគេហៅថា ណាមួយ ។ ត្រង់ពាក្យថា ភិក្ខុ ។ បេ ។ សេចក្តីថា ភិក្ខុនេះគេអធិប្បាយក្នុងសេចក្តីនេះ ។ ដែលឈ្មោះថា ស្រុក (នោះ) គឺស្រុកដែលមានខ្ទមមួយក្តី ស្រុកដែលមានខ្ទមពីរក្តី ស្រុកដែលមានខ្ទមបីក្តី ស្រុកដែលមានខ្ទមបួនក្តី ស្រុកដែលមានមនុស្សក្តី ស្រុកដែលឥតមនុស្សក្តី ស្រុកដែលមានរបងឬកំផែងក្តី ស្រុកដែលឥតរបងឬកំផែងក្តី ស្រុកដែលគេទើបតាំងនៅថ្មី (មានផ្ទះពីរបី) ដូចជាគោដេកក្តី ពួកនោះសោត បរិវេណណាដែលមានពួកឈ្មួញបានអាស្រ័យនៅលើសជាង ៤ ខែឡើងទៅ បរិវេណនោះក៏លោកហៅថា ស្រុក ។ ដែលឈ្មោះថា ឧបចារនៃស្រុក (នោះ) គឺទីដែលធ្លាក់ចុះដុំដីរបស់មជ្ឈិមបុរសឈរក្បែរធរណីទ្វារស្រុកដែលមានរបងឬកំផែង ចោលទៅ (ឬ) ទីដែលធ្លាក់ចុះដុំដីរបស់មជ្ឈិមបុរសឈរក្បែរឧបចារផ្ទះនៃស្រុកដែលឥតរបងឬកំផែង ចោលទៅ ។ ដែលឈ្មោះថា ព្រៃ (នោះ) គឺទីដ៏សេសលើកលែងតែស្រុកនិងឧបចារនៃស្រុកចេញ ឈ្មោះថាព្រៃ ។ ដែលឈ្មោះថា ទ្រព្យដែលគេមិនបានឲ្យ (នោះ) គឺរបស់ណាដែលគេមិនទាន់ឲ្យ មិនទាន់លះបង់ឲ្យ មិនទាន់ដាច់ចិត្តឲ្យ គេរក្សាទុក គេគ្រប់គ្រងទុក

មមាយិតំ បរបរិគ្គហិតំ ឯតំ អទិន្នំ នាម ។ ថេយ្យសង្ខាតន្តិ ថេយ្យចិត្តោ អវហរណចិត្តោ ។

(៨៦) អាទិយេយ្យាតិ អាទិយេយ្យ ហរេយ្យ អវហរេយ្យ ឥរិយាបថំ វិកោបេយ្យ ឋានា ចាវេយ្យ សង្កេតំ វីតិនាមេយ្យ ។

(៨៧) យថារូបំ នាម បាទំ វា បាទារហំ វា អតិរេកបាទំ វា ។ រាជានោ នាម បឋព្យា រាជា បទេសរាជា មណ្ឌលិកា អន្តរភោគិកា អក្ខទស្សា មហាមត្តា យេ វា បន ឆេជ្ជភេជ្ជំ អនុសាសន្តិ ឯតេ រាជានោ នាម ។ ចោរោ នាម យោ បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ អទិន្នំ ថេយ្យសង្ខាតំ អាទិយតិ ឯសោ ចោរោ នាម ។ ហនេយ្យុំ វាតិ



គេនៅប្រកាន់ គេនៅហួងហែង ទ្រព្យនោះឈ្មោះថា ទ្រព្យដែលគេមិនបានឲ្យ ។ ត្រង់បទថា ដោយចំណែកនៃចិត្តលួច សេចក្តីថា ភិក្ខុដាក់ចិត្តជាអ្នកលួច គឺថា ភិក្ខុមានចិត្តប្រុងនឹងលួច ។

(៨៦) ត្រង់បទថា គប្បីកាន់យក សេចក្តីថា ភិក្ខុគប្បីចាប់យក គប្បីនាំទៅ គប្បីលួចយក គប្បីឲ្យកំរើកឥរិយាបថ គប្បីឲ្យឃ្លាតចាកទី គប្បីឈានកន្លងនូវទីដែលកំណត់ ។

(៨៧) ដែលឈ្មោះថា មានសភាពយ៉ាងណា (នោះ) គឺទ្រព្យចំនួនមួយបាទ ឬទ្រព្យគួរដល់ថ្លៃមួយបាទ ឬថា ថ្លៃលើសជាងមួយបាទឡើងទៅ ។ ដែលឈ្មោះថា ស្តេចទាំងឡាយ (នោះ) គឺស្តេចជាធំលើប្រថ-ពីទាំងអស់ ស្តេចជាធំក្នុងប្រទេស ពួកអ្នកគ្រងមណ្ឌល (ចៅហ្វាយខេត្ត) ពួកអ្នកបរិភោគស្រុកជាលំដាប់ (ចៅហ្វាយស្រុក) ពួកអ្នកកាត់ក្តី ពួកមហាមាត្យ ពុំនោះសោត ពួកសព្វជនណាជាអ្នកត្រួតត្រាក្នុងការកាប់សម្លាប់ ពួកសព្វជនទាំងនោះ ឈ្មោះថាស្តេច ។ ដែលឈ្មោះថា ចោរ (នោះ) គឺអ្នកណាដែលកាន់យកទ្រព្យដែលម្ចាស់គេមិនបានឲ្យ មានថ្លៃប្រមាណ ៥ មាសក ឬលើសជាង ៥ មាសកឡើងទៅ ដោយចំណែកនៃចិត្តលួច អ្នកនោះឈ្មោះថា ចោរ ។ ត្រង់ពាក្យថា គប្បីសម្លាប់ក្តី

ហត្ថេន វា បាទេន វា កសាយ វា វេត្តេន វា អឌ្ឍទណ្ឌកេន វា ឆេជ្ជាយ វា ហនេយ្យ ។ ពន្ធេយ្យ វាតិ រជ្ជុពន្ធនេន វា អន្ទុពន្ធនេន វា សង្ខលិកពន្ធនេន វា ឃរពន្ធនេន វា នគរពន្ធនេន វា គាមពន្ធនេន វា និគមពន្ធនេន វា ពន្ធេយ្យ បុរិសគុត្តិំ វា ករេយ្យ ។ បព្វាជេយ្យ វាតិ គាមា វា និគមា វា នគរា វា ជនបទា វា ជនបទបទេសា វា បព្វាជេយ្យ ។ ចោរោសិ ពា-លោសិ មូឡ្ហោសិ ថេនោសីតិ បរិភាសោ ឯសោ ។

(៨៨) តថារូបំ នាម បាទំ វា បាទារហំ វា អតិរេកបាទំ វា ។ អាទិយមានោតិ អាទិយមានោ ហរមានោ អវហរមានោ ឥរិយាបថំ វិកោបយមានោ ឋានា ចាវយមានោ សង្កេតំ វីតិនាមយមានោ ។



សេចក្តីថា គប្បីសម្លាប់ដោយដៃក្តី ដោយជើងក្តី ដោយរំពាត់ខ្សែក្តី ដោយផ្តៅក្តី ដោយដម្បងវែងក្តី ដោយកាប់កាត់ក្តី ។ ត្រង់ពាក្យថា គប្បីចងក្តី សេចក្តីថា គប្បីចងដោយចំណងគឺខ្សែក្តី ដោយចំណងគឺខ្នោះក្តី ដោយចំណងគឺច្រវាក់ក្តី ដោយបង្ខាំងទុកក្នុងផ្ទះក្តី ដោយបង្ខាំងទុកក្នុងក្រុងក្តី ដោយបង្ខាំងទុកក្នុងស្រុកក្តី ដោយបង្ខាំងទុកក្នុងនិគមក្តី ឬគប្បីធ្វើនូវការឃុំខាំងដោយបុរស ។ ត្រង់ពាក្យថា គប្បីបំបរបង់ក្តី ឬថាគប្បីនិរទេសក្តី សេចក្តីថា គប្បីបំបរបង់ចាកស្រុកក្តី ចាកនិគមក្តី ចាកក្រុងក្តី ចាកជនបទក្តី ចាកប្រទេសក្នុងជនបទក្តី ។ ត្រង់ពាក្យ ៤ ម៉ាត់ថា អ្នកឯងជាចោរ អ្នកឯងជាពាល អ្នកឯងជាមនុស្សវង្វេង អ្នកឯងជាអ្នកលួចនេះ ជាពាក្យជេរប្រទេច ។

(៨៨) ដែលឈ្មោះថា មានសភាពដូច្នោះ (នោះ) គឺទ្រព្យចំនួនមួយបាទ ឬទ្រព្យគួរដល់ថ្លៃមួយបាទ ឬថា ក្រៃលែងជាងមួយបាទឡើងទៅ ។ ត្រង់ពាក្យថា កាលកាន់យក សេចក្តីថា កាលចាប់យក កាលនាំទៅ កាលលួច កាលឲ្យកំរើកឥរិយាបថ កាលឲ្យឃ្លាតចាកទី កាលឲ្យកន្លងនូវសង្កេតដែលកំណត់ ។

(៨៩) អយម្បីតិ បុរិមំ ឧបាទាយ វុច្ចតិ ។ បារាជិកោ ហោតីតិ សេយ្យថាបិ នាម បណ្ឌុបលាសោ ពន្ធនា បមុត្តោ[១] អភព្វោ ហរិតត្ថាយ ឯវមេវ ភិក្ខុ បាទំ វា បាទារហំ វា អតិរេកបាទំ វា អទិន្នំ ថេយ្យសង្ខាតំ អាទិយិត្វា អស្សមណោ ហោតិ អសក្យបុត្តិយោ តេន វុច្ចតិ បារាជិកោ ហោតីតិ ។ អសំវាសោតិ សំវាសោ នាម ឯកកម្មំ ឯកុទ្ទេសោ សមសិក្ខតា ឯសោ សំវាសោ នាម សោ តេន សទ្ធឹ នត្ថិ តេន វុច្ចតិ អសំវាសោតិ ។

(៩០) ភូមដ្ឋំ ថលដ្ឋំ អាកាសដ្ឋំ វេហាសដ្ឋំ ឧទកដ្ឋំ នាវដ្ឋំ យានដ្ឋំ ភារដ្ឋំ អារាមដ្ឋំ វិហារដ្ឋំ ខេត្តដ្ឋំ វត្ថុដ្ឋំ គាមដ្ឋំ អរញ្ញដ្ឋំ ឧទកំ ទន្តបោណំ វនប្បតិ

---

១ បមុត្តោតិបិ បាឋោ ។



(៨៩) ត្រង់បទថា ភិក្ខុនេះដែរ គឺពោលប្រៀបធៀបនឹងភិក្ខុដែលមានក្នុងសិក្ខាបទមុន ។ ត្រង់ពាក្យថា ជាបារាជិក អធិប្បាយថា សេចក្តីឧបមាថា ធម្មតាស្លឹកឈើទុំដែលជ្រុះចាកទងហើយ មិនអាចត្រឡប់ទៅជាមានពណ៌ខៀវវិញបាន ដូចម្តេចមិញ ភិក្ខុកាន់យកទ្រព្យដែលគេមិនបានឲ្យចំនួន ១ បាទ ឬគួរដល់ថ្លៃ ១ បាទ ឬជាក្រៃលែងជាង ១ បាទឡើងទៅ ដោយចំណែកនៃចិត្តលួច ក៏មិនមែនជាសមណៈ មិនមែនជាពូជពង្សរបស់ព្រះពុទ្ធជាសក្យបុត្រ ដូច្នោះដែរ ព្រោះហេតុនោះ បានជាលោកហៅ ភិក្ខុនោះជាបារាជិក ។ ត្រង់បទថា រកសំវាសគ្មាន (នោះ) សេចក្តីថា សង្ឃកម្មជាមួយគ្នា ឧទ្ទេសជាមួយគ្នា ការសិក្សាស្មើគ្នា នេះឈ្មោះថា សំវាស សំវាសនោះមិនមានជាមួយនឹងភិក្ខុដែលត្រូវបារាជិកនោះឡើយ ព្រោះហេតុនោះ បានជាលោកហៅថា រកសំវាសគ្មាន ។

(៩០) (មាតិកាឈ្មោះទ្រព្យ) ទ្រព្យដែលស្ថិតនៅក្នុងដី ស្ថិតនៅលើគោក ស្ថិតនៅឰដ៏អាកាស ស្ថិតនៅលើឆ្អើរ ស្ថិតនៅក្នុងទឹក ស្ថិតនៅក្នុងទូក ស្ថិតនៅលើយាន ស្ថិតនៅលើភារៈ ស្ថិតនៅក្នុងឧទ្យាន ស្ថិតនៅក្នុងវត្ត ស្ថិតនៅក្នុងស្រែ ស្ថិតនៅក្នុងទីដី ស្ថិតនៅក្នុងស្រុក ស្ថិតនៅក្នុងព្រៃ ទឹក ឈើស្ទន់ ដើមឈើ

ហរណកំ ឧបនិធិ សុង្កឃាតំ បាណោ អបទំ ទ្វិបទំ ចតុប្បទំ ពហុប្បទំ ឱចរកោ ឱណិរក្ខោ សំវិទាវហារោ សង្កេតកម្មំ និមិត្តកម្មន្តិ ។

(៩១) ភុម្មដ្ឋំ នាម ភណ្ឌំ ភូមិយំ និក្ខិត្តំ ហោតិ[១] បដិច្ឆន្នំ ។ ភុម្មដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ កុទ្ទាលំ វា បិដកំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ តត្ថ ជាតកំ កដ្ឋំ វា លតំ វា ឆិន្ទតិ អាបត្តិ ទុក្កដស្ស ។ បំសុំ ខណតិ វា វិយូហតិ[២] វា ឧទ្ធរតិ វា អាបត្តិ ទុក្កដស្ស ។ កុម្ភឹ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ អត្តនោ ភាជនំ បវេសេត្វា បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ អត្តនោ ភាជនគតំ វា ករោតិ មុដ្ឋឹ វា ឆិន្ទតិ អាបត្តិ បារាជិកស្ស ។ សុត្តារុឡ្ហំ ភណ្ឌំ[៣] បាមង្គំ វា កណ្ឋសុត្តកំ វា[៤] កដិសុត្តកំ វា សាដកំ វា

១ ឥតោ បរំ មរម្មពោត្ថកេសុ និខាតន្តិបិ អត្ថិ ។ ២ ឱ. វ្យូហតិ ម. ភ. ព្យូហតិ ។ ៣ ឥតោ បរំ ឱរោបិយពោត្ថកេ ភណ្ឌំ ទិស្សតិ ។ ៤ ឥតោ បរំ ឥត្ថ ឱ មរម្មពោត្ថកេ កណ្ឋសុត្តកំ វាតិ បាឋោ អត្ថិ ។



របស់ដែលគេគិតនាំទៅ របស់ដែលគេផ្ញើ ទីដែលហូតពន្ធ (គយ) សត្វមានជីវិត គឺមនុស្ស សត្វគ្មានជើង សត្វជើងពីរ សត្វជើងបួន សត្វជើងច្រើន អ្នកកំណត់របស់ដើម្បីឲ្យគេលួច អ្នករក្សារបស់ផ្ញើទុក មួយរំពេច កិរិយាលួចយកដោយបបួលគ្នា សង្កេតកម្ម និមិត្តកម្ម ។

(៩១) ដែលឈ្មោះថាទ្រព្យស្ថិតនៅក្នុងដី (នោះ) គឺទ្រព្យដែលគេកប់លាក់ក្នុងក្នុងដី ។ ភិក្ខុមានថេយ្យចិត្តថា អាត្មាអញនឹងលួចនូវទ្រព្យដែលស្ថិតនៅក្នុងដី ហើយស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្តី ស្វែងរកចបកាប់ កញ្ជើក្តី ដើរទៅកាន់ទីក្តី ត្រូវអាបត្តិទុក្កដ ។ ភិក្ខុកាត់នូវឈើ ឬវល្លិដែលកើតក្នុងទីនោះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុជីក ឬកកាយ ឬគាស់នូវកំទេចដី ត្រូវអាបត្តិទុក្កដ ។ ភិក្ខុពាល់នូវឆ្នាំង ត្រូវអាបត្តិទុក្កដ ។ ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តបញ្ចូលនូវភាជនៈរបស់ខ្លួនទៅ ហើយពាល់នូវវត្ថុមានថ្លៃប្រាំមាសក ឬក៏លើសជាងប្រាំមាសកឡើងទៅ ត្រូវអាបត្តិទុក្កដ ។ ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើទ្រព្យឲ្យចូលទៅក្នុងភាជនៈរបស់ខ្លួនក្តី កាត់ផ្តាច់នូវក្តាប់ដៃក្តី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តពាល់នូវគ្រឿងដែលគេរោយក្រងដោយខ្សែ គឺសង្វារក្តី ខ្សែកក្តី ខ្សែចង្កេះក្តី សំពត់សាដកក្តី

វេឋនំ វា ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ កោដិយំ គហេត្វា ឧទ្ធារេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឃំសន្តោ នីហរតិ អាបត្តិ ថុល្លច្ចយស្ស ។ អន្តមសោ កេសគ្គមត្តម្បិ កុម្ភីមុខា មោចេតិ អាបត្តិ បារាជិកស្ស ។ សប្បឹ វា តេលំ វា មធុំ វា ផាណិតំ វា បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ ឯកេន បយោគេន បិវតិ អាបត្តិ បារាជិកស្ស ។ តត្ថេវ ភិន្ទតិ វា ឆឌ្ឌេតិ វា ឈាបេតិ វា អបរិភោគំ វា ករោតិ អាបត្តិ ទុក្កដស្ស ។

(៩២) ថលដ្ឋំ នាម ភណ្ឌំ ថលេ និក្ខិត្តំ ហោតិ ។ ថលដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។

(៩៣) អាកាសដ្ឋំ នាម ភណ្ឌំ អាកាសគតំ ហោតិ មោរោ វា កបិញ្ជរោ វា តិត្តិរោ វា វដ្ដកោ វា សាដកំ វា វេឋនំ វា ហិរញ្ញំ វា សុវណ្ណំ វា ឆិជ្ជមានំ បតតិ ។



ឈ្នួតក្តី ត្រូវអាបត្តិទុក្កដ ។ ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ចាប់ត្រង់ចំពុក ហើយលើកឡើង ត្រូវអាបត្តិថុល្លច្ច័យ ។ កាលបើបំរះទ្រព្យនាំយកចេញ ត្រូវអាបត្តិថុល្លច្ច័យ ។ ដោយហោចទៅសូម្បីតែឲ្យផុតមាត់ក្អម ប្រមាណប៉ុនចុងសក់ ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តផឹកនូវសប្បិក្តី ប្រេងក្តី ទឹកឃ្មុំក្តី ទឹកអំពៅក្តី ជារបស់មានដំឡៃប្រមាណ ៥ មាសក ឬក៏លើសជាង ៥ មាសកឡើងទៅ ដោយប្រយោគតែមួយ ត្រូវអាបត្តិបារាជិក ។ ភិក្ខុទំលាយក្តី ចាក់ចោលក្តី ដុតចោលក្តី ធ្វើ (ឲ្យវត្ថុមានសប្បិជាដើមនោះ) ឲ្យជារបស់ប្រើប្រាស់មិនកើតក្តី ក្នុងទីនោះឯង ត្រូវអាបត្តិទុក្កដ ។

(៩២) ដែលឈ្មោះថា ទ្រព្យស្ថិតនៅលើគោក (នោះ) គឺទ្រព្យដែលគេដម្កល់ទុកលើទីគោក ។ ភិក្ខុមានថេយ្យចិត្តថា អញនឹងលួចទ្រព្យដែលស្ថិតនៅលើទីគោក ហើយស្វែងរកគ្នាឲ្យបានពីរនាក់ក្តី ដើរទៅតែឯងក្តី ត្រូវអាបត្តិទុក្កដ ចាប់ពាល់ត្រូវអាបត្តិទុក្កដ ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។

(៩៣) ដែលឈ្មោះថា ទ្រព្យស្ថិតនៅក្នុងអាកាស (នោះ) គឺភណ្ឌៈ ដែលទៅក្នុងអាកាស ទោះសត្វក្ងោកក្តី ចតាកក្តី ទទាក្តី តាបក្តី ឬជាសំពត់សាដកក្តី ឈ្នួតក្តី ប្រាក់ក្តី មាសក្តី ដែលដាច់ធ្លាក់ចុះ ។ ភិក្ខុមានថេយ្យចិត្ត

អាកាសដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ គមនំ ឧបច្ឆិន្ទតិ អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។

(៩៦) វេហាសដ្ឋំ នាម ភណ្ឌំ វេហាសគតំ ហោតិ មញ្ចេ វា បីឋេ វា ចីវរវំសេ វា ចីវររជ្ជុយា វា ភិត្តិខីលេ វា នាគទន្តេ វា រុក្ខេ វា អន្តមសោ បត្តាធារកេបិ ។ វេហាសដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។

(៩៧) ឧទកដ្ឋំ នាម ភណ្ឌំ ឧទកេ និក្ខិត្តំ ហោតិ ។ ឧទកដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា



ថា អញនឹងលួចទ្រព្យដែលស្ថិតនៅក្នុងអាកាស ហើយស្វែងរកគ្នាឲ្យបានជាពីរនាក់ក្តី ដើរទៅតែឯងក្តី ត្រូវអាបត្តិទុក្កដ ។ ផ្តាច់បង់នូវដំណើរ ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ ត្រូវអាបត្តិទុក្កដ ។ ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។

(៩៦) ដែលឈ្មោះថា ទ្រព្យស្ថិតនៅលើធ្នើរ (នោះ) គឺភណ្ឌដែលផ្គួលនៅលើធ្នើរ (អធិប្បាយថា) ទ្រព្យដែលគេផ្គួលទុកលើគ្រែក្តី លើតាំងក្តី ឬទ្រព្យដែលគេពាក់លើឈើរស្សៀនសំរាប់ពាក់ចីវរក្តី លើខ្សែរសំរាប់ពាក់ចីវរក្តី លើចម្រឹងជញ្ជាំងក្តី លើដៃកក្តី ដែលគេព្យួរទុកលើដើមឈើក្តី ដោយហោចទៅទ្រព្យដែលគេផ្គួលទុកលើជើងបាត្រក៏ដោយ ។ ភិក្ខុមានថេយ្យចិត្តថា អញនឹងលួចយកភណ្ឌដែលស្ថិតនៅលើធ្នើរ ហើយស្វែងរកគ្នាឲ្យបានជាពីរនាក់ក្តី ដើរទៅតែឯងក្តី ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ ត្រូវអាបត្តិទុក្កដ ។ ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។

(៩៧) ដែលឈ្មោះថា ទ្រព្យស្ថិតនៅក្នុងទឹក (នោះ) គឺភណ្ឌដែលគេផ្គួលទុកក្នុងទឹក ។ ភិក្ខុមានថេយ្យចិត្តថា អញនឹងលួចភណ្ឌដែលស្ថិតនៅក្នុងទឹក ហើយស្វែងរកគ្នាឲ្យបានជាពីរនាក់ក្តី ដើរទៅតែឯងក្តី

អាបត្តិ ទុក្កដស្ស ។ និមុជ្ជតិ វា ឧម្មុជ្ជតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ តត្ថ ជាតកំ ឧប្បលំ វា បទុមំ វា បុណ្ឌរីកំ វា ភិសំ វា មច្ឆំ វា កច្ឆបំ វា បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។

[៨៦] នាវា នាម យាយ តរតិ ។ នាវដ្ឋំ នាម ភណ្ឌំ នាវាយ និក្ខិត្តំ ហោតិ ។ នាវដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ នាវំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា



ត្រូវអាបត្តិទុក្កដ ។ មុជចុះក្តី ងើបឡើងក្តី ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ ត្រូវអាបត្តិទុក្កដ ។ ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់ផ្កាឧប្បលក្តី ផ្កាឈូកក្រហមក្តី ផ្កាឈូកសក្តី ក្រអៅឈូកក្តី ត្រីក្តី អណ្តើកក្តី ដែលកើតក្នុងទឹកនោះ មានដំឡៃ ៥ មាសកក្តី លើសពី ៥ មាសកក្តី ត្រូវអាបត្តិទុក្កដ ។ ធ្វើរបស់នោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើរបស់នោះឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។

[៨៦] គេឆ្លង (ទូទៅមានទឹកមានស្ទឹងនឹងទន្លេជាដើម) ដោយរបស់ណា របស់នោះឈ្មោះថាទូក[១] ។ ទ្រព្យដែលគេដាក់ទុកនៅក្នុងទូក ឬលើទូក ឈ្មោះថាទ្រព្យស្ថិតនៅក្នុងទូក ។ ភិក្ខុមានថេយ្យចិត្តគិតថា អាត្មានឹងលួចយកទ្រព្យដែលស្ថិតនៅក្នុងទូក ហើយស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្តី ដើរទៅម្នាក់ឯងក្តី ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ (ទ្រព្យនោះ) ត្រូវអាបត្តិទុក្កដ ។ (ធ្វើទ្រព្យនោះ) ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ (ធ្វើទ្រព្យនោះ) ឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តគិតថា អាត្មានឹងលួចយកទូក ហើយស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្តី ដើរទៅម្នាក់ឯងក្តី

១ ក្នុងអដ្ឋកថាថា ស្លាកសម្រាប់ផ្ទៃលក់ក្តី ដាច់មួយក្តី ស្លុកក្តី ឲ្យឈ្មោះថា នាវា ដែលប្រែថា ទូក ក្នុងទីនេះ ។

អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ពន្ធំ មោចេតិ អាបត្តិ ទុក្កដស្ស ។ ពន្ធំ មោចេត្វា អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឧទ្ធំ វា អធោ វា តិរិយំ វា អន្តមសោ កេសគ្គមត្តម្បិ សង្កាមេតិ អាបត្តិ បារាជិកស្ស ។

(៩៧) យានំ នាម វយ្ហំ រថោ សកដំ សន្ទមានិកា ។ យានដ្ឋំ នាម ភណ្ឌំ យានេ និក្ខិត្តំ ហោតិ ។ យានដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ យានំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។



ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ (ទូកនោះ) ត្រូវអាបត្តិទុក្កដ ។ ធ្វើទូកនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ស្រាយចំណង ត្រូវអាបត្តិទុក្កដ ។ ស្រាយចំណងរួចហើយចាប់ត្រូវ (ទូក) ត្រូវអាបត្តិទុក្កដ ។ (ធ្វើទូក) ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ (ធ្វើទូក) ឲ្យអណ្តែតច្រាសទឹកក្តី បណ្តោយទឹកក្តី ទទឹងទឹកក្តី ដោយហោចទៅ សូម្បីធ្វើឲ្យឃ្លាតចាកទីប៉ុនចុងម្រៀមសក់ ត្រូវអាបត្តិបារាជិក ។

(៩៧) អង្រឹងស្នែង រថ រទេះ រថទ្រង់គ្រឿង ឈ្មោះថាយាន ។ ទ្រព្យដែលដាក់ក្នុងយានឬលើយាន ឈ្មោះថា ទ្រព្យស្ថិតនៅលើយាន ។ ភិក្ខុមានថេយ្យចិត្តគិតថា អាត្មានឹងលួចទ្រព្យដែលស្ថិតនៅលើយាន ហើយស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្តី ដើរទៅម្នាក់ឯងក្តី ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ទ្រព្យនោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើទ្រព្យនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើទ្រព្យនោះឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តគិតថា អាត្មានឹងលួចយកយាន ហើយស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្តី ដើរទៅម្នាក់ឯងក្តី ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់យាននោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើយាននោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើយាននោះឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។

(៩៨) ភារោ នាម សីសភារោ ខន្ធភារោ កដិភារោ ឱលម្ពកោ ។ សីសេ ភារំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ខន្ធំ ឱរោបេតិ អាបត្តិ បារាជិកស្ស ។ ខន្ធេ ភារំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ កដឹ ឱរោបេតិ អាបត្តិ បារាជិកស្ស ។ កដិយា ភារំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ហត្ថេន គណ្ហាតិ អាបត្តិ បារាជិកស្ស ។ ហត្ថេ ភារំ ថេយ្យចិត្តោ ភូមិយំ និក្ខិបតិ អាបត្តិ បារាជិកស្ស ។ ថេយ្យចិត្តោ ភូមិតោ គណ្ហាតិ អាបត្តិ បារាជិកស្ស ។

(៩៩) អារាមោ នាម បុប្ផារាមោ ផលារាមោ ។ អារាមដ្ឋំ នាម ភណ្ឌំ អារាមេ ចតូហិ ឋានេហិ និក្ខិត្តំ ហោតិ ភូមដ្ឋំ ថលដ្ឋំ អាកាសដ្ឋំ វេហាសដ្ឋំ ។ អារាមដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ



(៩៨) ទ្រព្យដែលនៅលើក្បាល (ទូល) នៅលើក (ទ្រព្យដែលរែកឬលី) នៅលើចង្កេះ (កណ្ដៀត) និងទ្រព្យដែលយួរនឹងដៃ ឈ្មោះថាភារៈ ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់ភារៈដែលនៅលើក្បាល ត្រូវអាបត្តិទុក្កដ ។ ធ្វើភារៈនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ដាក់ភារៈនោះចុះមកដល់ត្រឹមក ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់ភារៈដែលនៅលើក ត្រូវអាបត្តិទុក្កដ ។ ធ្វើភារៈនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ដាក់ចុះមកដល់ត្រឹមចង្កេះ ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់ភារៈដែលនៅលើចង្កេះ ត្រូវអាបត្តិទុក្កដ ។ ធ្វើភារៈនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ដាក់ចុះមកកាន់ជាប់នឹងដៃ ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តដាក់ចុះនូវភារៈដែលនៅក្នុងដៃមកលើផែនដី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តកាន់យកទ្រព្យអំពីផែនដីទៅ ត្រូវអាបត្តិបារាជិក ។

(៩៩) សួនផ្កាឈើ សួនផ្លែឈើ ឈ្មោះថាអារាម (សួនច្បារ) ។ ទ្រព្យដែលបុគ្គលដាក់ទុកក្នុងសួនច្បារមាន ៤ កន្លែង គឺក្នុងដី ១ លើគោក ១ ឯអាកាស ១ លើធ្នើរ ១ ឈ្មោះថា ទ្រព្យស្ថិតនៅក្នុងសួនច្បារ ។ ភិក្ខុមានថេយ្យចិត្តគិតថា អញនឹងលួចទ្រព្យនៅក្នុងសួនច្បារ ហើយស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្ដី ទៅម្នាក់ឯងក្ដី

គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ តត្ថ ជាតកំ មូលំ វា តចំ វា បត្តំ វា បុប្ផំ វា ផលំ វា បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ អារាមំ អភិយុញ្ជតិ អាបត្តិ ទុក្កដស្ស ។ សាមិកស្ស វិមតឹ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ សាមិកោ ន មយ្ហំ ភវិស្សតីតិ ធុរំ និក្ខិបតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ សាមិកំ បរាជេតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ បរជ្ជតិ អាបត្តិ ថុល្លច្ចយស្ស ។

[១០០] វិហារដ្ឋំ នាម ភណ្ឌំ វិហារោ ចតូហិ ឋានេហិ និក្ខិត្តំ ហោតិ ភុម្មដ្ឋំ ថលដ្ឋំ អាកាសដ្ឋំ វេហាសដ្ឋំ ។



ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ទ្រព្យនោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើទ្រព្យនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើទ្រព្យនោះឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់ឫសឈើក្តី សម្បកឈើក្តី ស្លឹកឈើក្តី ផ្កាឈើក្តី ផ្លែឈើក្តី ដែលដុះក្នុងសួនច្បារនោះ ទោះមានថ្លៃប្រមាណ ៥ មាសកក្តី លើសពី ៥ មាសកទៅក្តី ត្រូវអាបត្តិទុក្កដ ។ ធ្វើរបស់នោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើរបស់នោះឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុចោទប្រកាន់យកសួនច្បារ ត្រូវអាបត្តិទុក្កដ ។ ធ្វើឲ្យម្ចាស់សួនច្បារសង្ស័យ ត្រូវអាបត្តិថុល្លច្ច័យ ។ បើម្ចាស់សួនច្បារដាក់ធុរៈថា សួនច្បារមុខជានឹងមិនបានមកអញវិញទេ ភិក្ខុត្រូវអាបត្តិបារាជិក ។ ភិក្ខុធ្វើការវិនិច្ឆ័យឲ្យម្ចាស់របស់ចាញ់ (គឺកាលដែលជំនុំជំរះក្នុងទីជំនុំសង្ឃ ឬក្នុងទីកាត់ក្តី ហើយសូមពួកអ្នកវិនិច្ឆ័យឲ្យយកសាក្សីកោង ធ្វើម្ចាស់សួនច្បារឲ្យចាញ់) ត្រូវអាបត្តិបារាជិក ។ ភិក្ខុធ្វើការវិនិច្ឆ័យចាញ់ម្ចាស់របស់ (គឺ បើពួកអ្នកវិនិច្ឆ័យកាត់សេចក្តីនោះតាមធម៌វិន័យជាសត្ថុសាសនា ហើយត្រឡប់ចាញ់ខ្លួនឯងវិញ) ត្រូវអាបត្តិថុល្លច្ច័យ ។

[១០០] ទ្រព្យដែលបុគ្គលដាក់ទុកក្នុងវិហារ (វត្ត) មាន ៤ កន្លែង គឺ ក្នុងដី ១ លើគោក ១ ឯអាកាស ១ លើធ្នើរ ១ ឈ្មោះថា

វិហារដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ វិហារំ អភិយុញ្ជតិ អាបត្តិ ទុក្កដស្ស ។ សាមិកស្ស វិមតិំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ សាមិកោ ន មយ្ហំ ភវិស្សតីតិ ធុរំ និក្ខិបតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ សាមិកំ បរាជេតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ បរជ្ជតិ អាបត្តិ ថុល្លច្ចយស្ស ។

(១០១) ខេត្តំ នាម យត្ថ បុព្វណ្ណំ វា អបរណ្ណំ វា ជាយតិ ។ ខេត្តេ ចតូហិ ឋានេហិ និក្ខិត្តំ ហោតិ ភូមដ្ឋំ ថលដ្ឋំ អាកាសដ្ឋំ វេហាសដ្ឋំ ។ ខេត្តដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា



ទ្រព្យនៅក្នុងវិហារ ។ ភិក្ខុមានថេយ្យចិត្តគិតថា អញនឹងលួចទ្រព្យដែលឋិតនៅក្នុងវិហារ ហើយស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្តី ដើរទៅម្នាក់ឯងក្តី ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ទ្រព្យនោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើទ្រព្យនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើទ្រព្យនោះឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុទៅប្រកាន់យកវត្ថុ ត្រូវអាបត្តិទុក្កដ ។ ធ្វើម្ចាស់វត្ថុឲ្យកើតសង្ស័យ ត្រូវអាបត្តិថុល្លច្ច័យ ។ បើម្ចាស់វត្ថុដាក់ធុរៈថា វត្ថុនឹងជាមិនបានមកអញវិញទេ ភិក្ខុត្រូវអាបត្តិបារាជិក ។ ភិក្ខុធ្វើការវិនិច្ឆ័យឲ្យម្ចាស់របស់ចាញ់ (គឺកាលដែលជំនុំជំរះក្នុងជំនុំសង្ឃ ឬក្នុងត្រកូល ភិក្ខុបានសូកដល់ពួកអ្នកវិនិច្ឆ័យឲ្យកាត់សេចក្តីដោយមិនយុត្តិធម៌) ត្រូវអាបត្តិបារាជិក ។ ភិក្ខុធ្វើការវិនិច្ឆ័យចាញ់ម្ចាស់របស់វិញ (គឺពួកអ្នកវិនិច្ឆ័យកាត់ក្តីដោយយុត្តិធម៌ ឲ្យភិក្ខុចាញ់វិញ) ត្រូវអាបត្តិថុល្លច្ច័យ ។

[១០១] ស្រូវទាំងឡាយ ៧ យ៉ាង មានស្រូវសាលីជាដើមក្តី ផ្លែឈើទាំងឡាយ មានសណ្តែកកជមាសជាដើមក្តី ដុះក្នុងទីណា ទីនោះ ឈ្មោះថា ខេត្ត (ស្រែ) ។ ទ្រព្យដែលបុគ្គលដាក់ទុកក្នុងស្រែមាន ៤ កន្លែង គឺក្នុងដី ១ លើគោក ១ ឯអាកាស ១ លើធ្នើ ១ ឈ្មោះថា ទ្រព្យនៅក្នុងស្រែ ។ ភិក្ខុមានថេយ្យចិត្តគិតថា អញនឹងលួចទ្រព្យនៅក្នុងស្រែដូច្នេះ ហើយស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្តី ដើរទៅម្នាក់ឯងក្តី

អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ តត្ថ ជាតកំ បុព្វណ្ណំ វា អបរណ្ណំ វា បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារា-ជិកស្ស ។ ខេត្តំ អភិយុញ្ជតិ អាបត្តិ ទុក្កដស្ស ។ សាមិកស្ស វិមតិំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ សាមិកោ ន មយ្ហំ ភវិស្សតីតិ ធុរំ និក្ខិបតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ សាមិកំ បរាជេតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ បរជ្ជតិ អាបត្តិ ថុល្លច្ច-យស្ស ។ ខីលំ វា រជ្ជុំ វា វតិំ វា មរិយាទំ វា សង្កាមេតិ អាបត្តិ ទុក្កដស្ស ។ ឯកំ បយោគំ អនា-គតេ អាបត្តិ ថុល្លច្ចយស្ស ។ តស្មឹ បយោគេ អាគតេ អាបត្តិ បារាជិកស្ស ។



ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ទ្រព្យនោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើទ្រព្យនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើទ្រព្យនោះឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់ស្រូវតាំទឡ្ហយ មានស្រូវសាលីជាដើមក្តី ផ្លែឈើតាំទឡ្ហយ មានសណ្តែកបាយជាដើមក្តី ដែលដុះក្នុងស្រែនោះ មានថ្លៃប្រមាណ ៥ មាសកក្តី លើសពី ៥ មាសកទៅក្តី ត្រូវអាបត្តិទុក្កដ ។ ធ្វើរបស់នោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើរបស់នោះឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុទៅចំរែកចាប់យកស្រែ ត្រូវអាបត្តិទុក្កដ ។ ធ្វើឲ្យម្ចាស់ស្រែកើតសង្ស័យ ត្រូវអាបត្តិថុល្លច្ច័យ ។ បើម្ចាស់ស្រែដាក់ធុរៈថា ស្រែមុខជានឹងមិនបានមកអញវិញទេ ដូច្នេះ ភិក្ខុត្រូវអាបត្តិបារាជិក ។ ភិក្ខុធ្វើការវិនិច្ឆ័យឲ្យម្ចាស់របស់ចាញ់ (គឺកាលដែលជំនុំជំរះក្នុងជំនុំសង្ឃ ឬក្នុងក្រសួង ហើយសូកគ្នាអ្នកវិនិច្ឆ័យឲ្យយកសាក្សីកោងធ្វើម្ចាស់ស្រែឲ្យចាញ់) ត្រូវអាបត្តិបារាជិក ។ ភិក្ខុធ្វើការវិនិច្ឆ័យចាញ់ម្ចាស់របស់ (គឺ បើភិក្ខុអ្នកវិនិច្ឆ័យកាត់ក្តីនោះតាមធម៌ជាសត្តសាសនា ហើយត្រឡប់ជាចាញ់លើខ្លួនឯងវិញ) ត្រូវអាបត្តិថុល្លច្ច័យ ។ ភិក្ខុបង្គិតគោលក្តី ខ្សែក្តី របងក្តី ទំនប់ក្តី ត្រូវអាបត្តិទុក្កដ ។ នៅតែប្រយោគមួយមិនទាន់មកដល់ ត្រូវអាបត្តិថុល្លច្ច័យ ។ លុះប្រយោគមួយនោះមកដល់ ត្រូវអាបត្តិបារាជិក ។

(១០៤) វត្ថុ នាម អារាមវត្ថុ វិហារវត្ថុ ។ វត្ថុដ្ឋំ នាម ភណ្ឌំ វត្ថុស្មឹ ចតូហិ ឋានេហិ និក្ខិត្តំ ហោតិ ភុម្មដ្ឋំ ថលដ្ឋំ អាកាសដ្ឋំ វេហាសដ្ឋំ ។ វត្ថុដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ វត្ថុំ អភិយុញ្ជតិ អាបត្តិ ទុក្កដស្ស ។ សាមិកស្ស វិមតឹ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ សាមិកោ ន មយ្ហំ ភវិស្សតីតិ ធុរំ និក្ខិបតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ សាមិកំ បរាជេតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ បរជ្ជតិ អាបត្តិ ថុល្លច្ចយស្ស ។ ខីលំ វា រជ្ជុំ វា



(១០៤) ទីសួនច្បារទីវិហារឈ្មោះថា វត្ថុ (ទីដី) ។ ទ្រព្យដែលគេដម្កល់ទុកក្នុងទីដី មាន ៤ កន្លែង គឺ ក្នុងដី ១ លើគោក ១ ឯអាកាស ១ លើឆ្អើរ ១ ឈ្មោះថាទ្រព្យឋិតនៅក្នុងទីដី ។ ភិក្ខុមានថេយ្យចិត្តគិតថា អញនឹងលួចទ្រព្យដែលគេដម្កល់ទុកក្នុងទីដី ស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្តី ដើរទៅម្នាក់ឯងក្តី ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ទ្រព្យនោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើទ្រព្យនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើទ្រព្យនោះឲ្យឃ្លាតផុតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុទាមទារយកទីដី ត្រូវអាបត្តិទុក្កដ ។ ធ្វើឲ្យម្ចាស់ដីកើតសង្ស័យ ត្រូវអាបត្តិថុល្លច្ច័យ ។ បើម្ចាស់ដីដាក់ធុរៈថា ដីមុខជាមិនបានមកអញវិញទេ ដូច្នេះ ភិក្ខុត្រូវអាបត្តិបារាជិក ។ ភិក្ខុធ្វើការវិនិច្ឆ័យឲ្យម្ចាស់របស់ចាញ់ (គឺកាលដែលជំនុំជំរះក្តីជំនុំសង្ឃប្រក្តី កល់ក្រគួល ហើយសូកពួកអ្នកវិនិច្ឆ័យឲ្យយកសាក្សីគោរពិ ធ្វើម្ចាស់ដីឲ្យចាញ់) ត្រូវអាបត្តិបារាជិក ។ ភិក្ខុធ្វើការវិនិច្ឆ័យចាញ់ម្ចាស់របស់ (គឺបើពួកអ្នកវិនិច្ឆ័យនោះកាន់តាមធម៌វិន័យជាសត្ថុសាសនា ហើយត្រឡប់ជាចាញ់ខ្លួនឯងវិញ) ត្រូវអាបត្តិថុល្លច្ច័យ ។ ភិក្ខុបង្គិតគោលក្តី ខ្សែក្តី

វតឹ វា បាការំ វា សង្កាមេតិ អាបត្តិ ទុក្កដស្ស ។ ឯកំ បយោគំ អនាគតេ អាបត្តិ ថុល្លច្ចយស្ស ។ តស្មឹ បយោគេ អាគតេ អាបត្តិ បារាជិកស្ស ។

(១០៣) គាមដ្ឋំ នាម ភណ្ឌំ គាមេ ចតូហិ ឋានេហិ និក្ខិត្តំ ហោតិ ភូមដ្ឋំ ថលដ្ឋំ អាកាសដ្ឋំ វេហាសដ្ឋំ ។ គាមដ្ឋំ ភណ្ឌំ អវហរិស្សាមីតិ ថេយ្យចិត្តោ ទុតិយំ វា បរិយេសតិ គច្ឆតិ វា អាបត្តិ ទុក្កដស្ស ។ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។

(១០៤) អរញ្ញំ នាម យំ មនុស្សានំ បរិគ្គហិតំ ហោតិ វនំ[១] អរញ្ញំ ។ អរញ្ញដ្ឋំ នាម ភណ្ឌំ

១ ឱ. ម. តំ ។



របងក្តី កំផែងក្តី ត្រូវអាបត្តិទុក្កដ ។ នៅតែប្រយោគមួយ មិនទាន់មកដល់ ត្រូវអាបត្តិថុល្លច្ច័យ ។ លុះប្រយោគមួយនោះមកដល់[១] ត្រូវអាបត្តិបារាជិក ។

(១០៣) ទ្រព្យដែលគេដម្កល់ទុកក្នុងស្រុកមាន ៤ កន្លែង គឺក្នុងដី ១ លើគោក ១ ឯអាកាស ១ លើឆ្នើរ ១ ឈ្មោះថាទ្រព្យឋិតនៅក្នុងស្រុក ។ ភិក្ខុមានថេយ្យចិត្តគិតថា អាត្មាអញនឹងលួចទ្រព្យដែលឋិតនៅក្នុងស្រុកដូច្នេះ ហើយស្វែងរកគ្នាឲ្យបានជាគំរប់ពីរនាក់ក្តី ដើរទៅម្នាក់ឯងក្តី ត្រូវអាបត្តិទុក្កដ ។ ចាប់ពាល់ទ្រព្យនោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើទ្រព្យនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើទ្រព្យនោះឲ្យឃ្លាតផុតចាកទី ត្រូវអាបត្តិបារាជិក ។

(១០៤) ដែលហៅថា ព្រៃ គឺទីណាដែលពួកមនុស្សហួងហែងរក្សា ទីនោះឈ្មោះថា ព្រៃ ។ ទ្រព្យដែលបុគ្គលដម្កល់ទុកក្នុងព្រៃមាន

១ អដ្ឋកថា ថា បណ្តាកិរិយាបង្អិតទាំងឡាយ មានបង្អិតគោលជាដើម នោះមានអធិប្បាយថា ធម្មតាដែនដីជារបស់ភាគីទ្វេមិនទាន់ ព្រោះហេតុដូច្នោះ បើសណ្ឋានដីនោះគេបោះគោលតែមួយស្រេច ភិក្ខុបង្អិតគោលឲ្យចូលទៅក្នុងដីនេះ ល្មមរឹបអូសយកផ្លាស់ នោះបើម្ចាស់គេឃើញក្តី មិនឃើញក្តី ត្រូវបារាជិក បើសណ្ឋានដីនោះគេបោះគោលពីរ ភិក្ខុបង្អិតគោលទី ១ ត្រូវថុល្លច្ច័យ ទី ២ ត្រូវបារាជិក បើសណ្ឋានដីនោះគេបោះគោលបី ភិក្ខុបង្អិតគោលទី ១ ត្រូវទុក្កដ ទី ២ ត្រូវថុល្លច្ច័យ ទី ៣ ត្រូវបារាជិក ។

ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ អត្តនោ ភាជនគតំ ករោតិ អាបត្តិ បារាជិកស្ស ។ មរិយាទំ ឆិន្ទតិ អាបត្តិ ទុក្កដស្ស ។ មរិយាទំ ឆិន្ទិត្វា បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ឧទកំ និក្ខាមេតិ អាបត្តិ បារាជិកស្ស ។ អតិរេកមាសកំ វា ឩនបញ្ចមាសកំ វា អគ្ឃនកំ ឧទកំ និក្ខាមេតិ អាបត្តិ ថុល្លច្ចយស្ស ។ មាសកំ វា ឩនមាសកំ វា អគ្ឃនកំ ឧទកំ និក្ខាមេតិ អាបត្តិ ទុក្កដស្ស ។

(១០៦) ទន្តបោណំ នាម ឆិន្នំ វា អច្ឆិន្នំ វា ។ បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។

(១០៧) វនប្បតិ នាម យោ មនុស្សានំ បរិគ្គហិតោ ហោតិ រុក្ខោ បរិភោគោ ។ ថេយ្យចិត្តោ ឆិន្ទតិ បហារេ បហារេ អាបត្តិ ទុក្កដស្ស ។ ឯកំ បហារំ អនាគតេ អាបត្តិ ថុល្លច្ចយស្ស ។ តស្មឹ បហារេ អាគតេ អាបត្តិ បារាជិកស្ស ។



ត្រូវអាបត្តិទុក្កដ ។ ធ្វើទឹកនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើទឹកនោះឲ្យបានដម្កល់ក្នុងភាជនៈរបស់ខ្លួន ត្រូវអាបត្តិបារាជិក ។ ភិក្ខុទំលុះភ្លឺស្រែ ត្រូវអាបត្តិទុក្កដ ។ ទំលុះភ្លឺស្រែហើយបង្ហូរយកទឹកមានថ្លៃប្រមាណ ៥ មាសកក្តី លើសពី ៥ មាសកក្តី ត្រូវអាបត្តិបារាជិក ។ ភិក្ខុបង្ហូរយកទឹកមានថ្លៃលើសពី ១ មាសកក្តី ថយពី ៥ មាសកចុះមកក្តី ត្រូវអាបត្តិថុល្លច្ច័យ ។ ភិក្ខុបង្ហូរយកទឹកមានថ្លៃ ១ មាសកក្តី ថយចុះពី ១ មាសកមកក្តី ត្រូវអាបត្តិទុក្កដ ។

(១០៦) (ឈើសម្រាប់ដុសធ្មេញ) ទោះគេកាត់ហើយក្តី គេមិនបានកាត់ក្តី ហៅថាឈើស្ទន់ ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់ឈើស្ទន់ដែលមានថ្លៃ ៥ មាសកក្តី លើសពី ៥ មាសកក្តី ត្រូវអាបត្តិទុក្កដ ។ ធ្វើឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។

(១០៧) ឈើណាជាគ្រឿងប្រើប្រាស់ ដែលមានពួកមនុស្សថែរក្សាទុក ឈើនោះឈ្មោះថាដើមឈើ ។ ភិក្ខុមានថេយ្យចិត្តកាត់ឈើនោះ ត្រូវអាបត្តិទុក្កដគ្រប់ៗប្រហារ ។ នៅប្រហារម្តងទៀតមិនទាន់មកដល់ (គឺថានៅតែប្រហារម្តងទៀតនឹងដាច់) ត្រូវអាបត្តិថុល្លច្ច័យ ។ លុះប្រហារម្តងទៀតមកដល់ (គឺថាបានកាត់ដាច់ហើយ) ត្រូវអាបត្តិបារាជិក ។

(១០៧) ហារណកំ នាម អញ្ញស្ស ហារណកំ ភណ្ឌំ ។ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ សហភណ្ឌហារកំ នេស្សាមីតិ បឋមំ បាទំ សង្កាមេតិ អាបត្តិ ថុល្លច្ចយស្ស ។ ទុតិយំ បាទំ សង្កាមេតិ អាបត្តិ បារាជិកស្ស ។ បតិតំ ភណ្ឌំ គហេស្សាមីតិ បាតាបេតិ អាបត្តិ ទុក្កដស្ស ។ បតិតំ ភណ្ឌំ បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។

(១០៨) ឧបនិធិ នាម ឧបនិក្ខិត្តំ ភណ្ឌំ ។ ទេហិ មេ ភណ្ឌន្តិ វុច្ចមានោ នាហំ គណ្ហាមីតិ ភណតិ អាបត្តិ ទុក្កដស្ស ។ សាមិកស្ស វិមតិំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ សាមិកោ ន មយ្ហំ ទស្សតីតិ ធុរំ និក្ខិបតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ



(១០៧) ទ្រព្យដែលបុគ្គលដទៃកំពុងនាំទៅ ឈ្មោះថា ទ្រព្យដែលគេកំពុងនាំទៅ ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់ទ្រព្យនោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើទ្រព្យនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើទ្រព្យនោះឲ្យឃ្លាតផុតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុគិតថា អញនឹងលួចយកទ្រព្យព្រមទាំងអ្នកនាំទ្រព្យ ហើយឲ្យមនុស្សនោះដើរទៅ ១ ជំហានដំបូង ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យមនុស្សនោះដើរទៅបាន ២ ជំហាន ភិក្ខុត្រូវអាបត្តិបារាជិក ។ ភិក្ខុមានថេយ្យចិត្តគិតថា អញនឹងយករបស់ដែលជ្រុះចុះ ហើយធ្វើរបស់គេឲ្យជ្រុះធ្លាក់ចុះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់របស់ដែលជ្រុះនោះ មានថ្លៃ ៥ មាសកក្តី លើសពី ៥ មាសកក្តី ត្រូវអាបត្តិទុក្កដ ។ ធ្វើឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ធ្វើឲ្យឃ្លាតផុតចាកទី ត្រូវអាបត្តិបារាជិក ។

(១០៨) ទ្រព្យដែលគេផ្ញើទុក ឈ្មោះថាបញ្ញើ ។ ម្ចាស់បញ្ញើនិយាយថា លោកចូរឲ្យទ្រព្យមកខ្ញុំ ភិក្ខុពោលថា អាត្មាមិនបានទទួលទុកទេ ត្រូវអាបត្តិទុក្កដ ។ ធ្វើឲ្យម្ចាស់របស់គេកើតសេចក្តីសង្ស័យ ត្រូវអាបត្តិថុល្លច្ច័យ ។ ម្ចាស់របស់ដាក់ធុរៈថា (ភិក្ខុនេះ) នឹងមិនឲ្យអញវិញទេ (ភិក្ខុនោះ) ត្រូវអាបត្តិបារាជិក ។ ភិក្ខុពីរព្រមវិនិច្ឆ័យ

សាមិកំ បរាជេតិ អាបត្តិ បារាជិកស្ស ។ ធម្មំ ចរន្តោ បរជ្ជតិ អាបត្តិ ថុល្លច្ចយស្ស ។

(១១០) សុង្កឃាតំ នាម រញ្ញា ឋបិតំ ហោតិ បព្វតខណ្ឌេ វា នទីតិត្ថេ វា គាមទ្វារេ វា អត្រ បវិដ្ឋស្ស សុង្កំ គណ្ហន្តូតិ ។ តត្រ បវិសិត្វា រាជគ្គំ ភណ្ឌំ បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ បឋមំ បាទំ សុង្កឃាតំ អតិក្កាមេតិ អាបត្តិ ថុល្លច្ចយស្ស ។ ទុតិយំ បាទំ អតិក្កាមេតិ អាបត្តិ បារាជិកស្ស ។ អន្តោសុង្កឃាតេ ឋិតោ ពហិសុង្កឃាតំ បាតេតិ អាបត្តិ បារាជិកស្ស ។ សុង្កំ បរិហរតិ អាបត្តិ ទុក្កដស្ស ។

(១១១) បាណោ នាម មនុស្សបាណោ វុច្ចតិ ។ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។



ឲ្យសរសៃមួយសេចក្តីឲ្យម្ចាស់បញ្ចេញចាញ់ ត្រូវអាបត្តិបារាជិក ។ កាល ក្រមនិងឲ្យសរសៃមួយសេចក្តីដោយធម៌ ភិក្ខុត្រឡប់ចាញ់វិញ ត្រូវអាបត្តិថុល្លច្ច័យ ។

(១១០) ទីសម្រាប់ហូតពន្ធដែលព្រះបរមក្សត្រទ្រង់បញ្ញត្តថា ជនណាទាំងឡាយចូលទៅក្នុងទីនោះ ។ គឺក្នុងទីភ្នំខណ្ឌក្តី ក្នុងទីកំពង់ទឹកក្តី ក្នុងទីទ្វារស្រុកក្តី ពួកជនបុរសត្រូវយកពន្ធពីជនទាំងនោះឈ្មោះថាគយ ។ ភិក្ខុចូលទៅក្នុងទីគយនោះហើយ មានថេយ្យចិត្ត ពាល់នូវទ្រព្យដ៏គួរដល់ព្រះរាជាទីយកពន្ធ មានដំឡៃ ៥ មាសកក្តី លើសពី ៥ មាសកក្តី ត្រូវអាបត្តិទុក្កដ ។ ភិក្ខុញាំងទ្រព្យនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ភិក្ខុឈានជំហានទី ១ ឲ្យកន្លងទីគយទៅ ត្រូវអាបត្តិថុល្លច្ច័យ ។ ភិក្ខុឈានជំហានទី ២ ឲ្យកន្លងទីគយទៅ ត្រូវអាបត្តិបារាជិក ។ ភិក្ខុឋិតនៅខាងក្នុងទីគយរបស់គយ ហើយបោះផ្តួលទ្រព្យឲ្យធ្លាក់ចុះទៅខាងក្រៅទីគយរបស់គយ ត្រូវអាបត្តិបារាជិក ។ ភិក្ខុនាំទ្រព្យគេចពន្ធ (ដោយវាងទីគយ) ត្រូវអាបត្តិទុក្កដ ។

(១១១) សត្វគឺមនុស្ស ហៅថាសត្វមានជីវិត ។ ភិក្ខុមានថេយ្យចិត្ត ចាប់ពាល់មនុស្សនោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។

ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ បទសា នេស្សាមីតិ បឋមំ បាទំ សង្កាមេតិ អាបត្តិ ថុល្លច្ចយស្ស ។ ទុតិយំ បាទំ សង្កាមេតិ អាបត្តិ បារាជិកស្ស ។

(១១២) អបទំ នាម អហិ មច្ឆា ។ បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។

(១១៣) ទ្វិបទំ នាម មនុស្សា បក្ខជាតា ។ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។ បទសា នេស្សាមីតិ បឋមំ បាទំ សង្កាមេតិ អាបត្តិ ថុល្លច្ចយស្ស ។ ទុតិយំ បាទំ សង្កាមេតិ អាបត្តិ បារាជិកស្ស ។

(១១៤) ចតុប្បទំ នាម ហត្ថី អស្សា ឱដ្ឋា គោណា គទ្រភា បសុកា ។ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។



ឲ្យផុតចាកទីទៅ ត្រូវអាបត្តិបារាជិក ។ ភិក្ខុគិតថា អញនឹងនាំមនុស្សដើរទៅដោយជើង ហើយឲ្យឈានជំហានទី ១ ទៅ ត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យឈានជំហានទី ២ ទៅ ត្រូវអាបត្តិបារាជិក ។

(១១២) ពស់ ត្រី ឈ្មោះ សត្វគ្មានជើង ។ ភិក្ខុមានថេយ្យចិត្ត ចាប់ពាល់នូវសត្វគ្មានជើង មានដំឡៃ ៥ មាសកក្តី លើសពី ៥ មាសកក្តី ត្រូវអាបត្តិទុក្កដ ។ ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យផុតចាកទី ត្រូវអាបត្តិបារាជិក ។

(១១៣) មនុស្ស សត្វស្លាប ហៅថា សត្វមានជើងពីរ ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់នូវសត្វជើងពីរនោះ ត្រូវអាបត្តិទុក្កដ ។ ធ្វើឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យឃ្លាតផុតចាកទី ត្រូវអាបត្តិបារាជិក ។ ភិក្ខុគិតថា អញនឹងនាំបណ្តើរសត្វជើង ២ ទៅដោយជើង ហើយឲ្យឈានជំហានទី ១ ត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យឈានជំហានទី ២ ត្រូវអាបត្តិបារាជិក ។

(១១៤) ដំរី សេះ អូដ្ឋ គោ លា ពពួកសត្វចិញ្ចឹម ហៅថា សត្វមានជើង ៤ ។ ភិក្ខុមានថេយ្យចិត្ត ចាប់ពាល់សត្វជើង ៤ នោះ ត្រូវអាបត្តិទុក្កដ ។ ឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យផុតចាកទី ត្រូវអាបត្តិបារាជិក ។

(១១៧) ឱណិរក្ខោ នាម អាហដំ ភណ្ឌំ គោបេន្តោ ។ បញ្ចមាសកំ វា អតិរេកបញ្ចមាសកំ វា អគ្ឃនកំ ថេយ្យចិត្តោ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ថុល្លច្ចយស្ស ។ ឋានា ចាវេតិ អាបត្តិ បារាជិកស្ស ។

(១១៨) សំវិធាវហារោ នាម សម្ពហុលា សំវិទហិត្វា ឯកោ ភណ្ឌំ អវហរតិ អាបត្តិ សព្វេសំ បារាជិកស្ស ។

(១១៩) សង្កេតកម្មំ នាម សង្កេតំ ករោតិ បុរេភត្តំ វា បច្ឆាភត្តំ វា រត្តឹ វា ទិវា វា តេន សង្កេតេន តំ ភណ្ឌំ អវហរាតិ អាបត្តិ ទុក្កដស្ស ។ តេន សង្កេតេន តំ ភណ្ឌំ អវហរតិ អាបត្តិ ឧភិន្នំ បារាជិកស្ស ។ តំ សង្កេតំ បុរេ វា បច្ឆា វា តំ ភណ្ឌំ អវហរតិ មូលដ្ឋស្ស អនាបត្តិ អវហារកស្ស អាបត្តិ បារាជិកស្ស ។



(១១៧) ភិក្ខុអ្នកថែទាំគ្រឿងទ្រព្យដែលគេនាំមកផ្ញើទុកមួយសំណើរ ហៅថា អ្នករក្សាបញ្ញើ ។ ភិក្ខុមានថេយ្យចិត្តចាប់ពាល់នូវទ្រព្យមានដំឡៃ ៥ មាសកក្ដី លើសពី ៥ មាសកក្ដី ត្រូវអាបត្តិទុក្កដ ។ ធ្វើទ្រព្យនោះឲ្យកំរើក ត្រូវអាបត្តិថុល្លច្ច័យ ។ ឲ្យឃ្លាតចាកទី ត្រូវអាបត្តិបារាជិក ។

(១១៨) ដែលហៅថាកិរិយាលួចយកដោយបបួលគ្នា (នោះ) គឺភិក្ខុដែលរួមគំនិតបបួលគ្នាច្រើនរូប ភិក្ខុ ១ រូបទៅលួចយកទ្រព្យបានមក ត្រូវអាបត្តិបារាជិកទាំងអស់គ្នា ។

(១១៩) ភិក្ខុធ្វើសញ្ញាកំណត់ពេលឲ្យលួច ហៅថា សង្កេតកម្ម ភិក្ខុប្រើភិក្ខុឲ្យទៅលួចថា អ្នកចូរលួចយកទ្រព្យនោះដោយសង្កេតនោះ គឺវេលាព្រឹកក្ដី ល្ងាចក្ដី យប់ក្ដី ថ្ងៃក្ដី ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុលួចទ្រព្យនោះបានមកតាមសង្កេតនោះ ត្រូវអាបត្តិបារាជិកទាំងពីររូប ។ ភិក្ខុទៅលួចទ្រព្យនោះមុនសង្កេតនោះក្ដី ក្រោយក្ដី ភិក្ខុអ្នកប្រើដើមមិនត្រូវអាបត្តិឡើយ ត្រូវអាបត្តិបារាជិកតែភិក្ខុអ្នកលួច ។

(១៦០) និមិត្តកម្មំ នាម និមិត្តំ ករោតិ អក្ខិំ វា និខណិស្សាមិ ភមុកំ វា ឧក្ខិបិស្សាមិ សីសំ វា ឧក្ខិបិស្សាមិ តេន និមិត្តេន តំ ភណ្ឌំ អវហរាតិ អាបត្តិ ទុក្កដស្ស ។ តេន និមិត្តេន តំ ភណ្ឌំ អវហរតិ អាបត្តិ ឧភិន្នំ បារាជិកស្ស ។ តំ និមិត្តំ បុរេ វា បច្ឆា វា តំ ភណ្ឌំ អវហរតិ មូលដ្ឋស្ស អនាបត្តិ អវហារកស្ស អាបត្តិ បារាជិកស្ស ។

(១៦១) ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ភណ្ឌំ អវហរាតិ អាបត្តិ ទុក្កដស្ស ។ សោ តំ មញ្ញមានោ តំ អវហរតិ អាបត្តិ ឧភិន្នំ បារាជិកស្ស ។ ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ភណ្ឌំ អវហរាតិ អាបត្តិ ទុក្កដស្ស ។ សោ តំ មញ្ញមានោ អញ្ញំ អវហរតិ មូលដ្ឋស្ស អនាបត្តិ អវហារកស្ស អាបត្តិ បារាជិកស្ស ។ ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ភណ្ឌំ អវហរាតិ អាបត្តិ ទុក្កដស្ស ។ សោ អញ្ញំ មញ្ញមានោ



(១៦០) ភិក្ខុធ្វើនិមិត្តឲ្យដឹងសំគាល់ឲ្យលួច ហៅថានិមិត្តកម្ម គឺភិក្ខុបង្គាប់ភិក្ខុដទៃថា ខ្ញុំនឹងប៉ប្រិចភ្នែកក្តី ញាក់ចិញ្ចើមក្តី ងក់ក្បាលក្តី អ្នកចូរលួចយកទ្រព្យនោះមកតាមនិមិត្តនោះ ភិក្ខុអ្នកប្រើនោះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកទទួលបង្គាប់ លួចទ្រព្យនោះបានមកតាមនិមិត្តនោះ ត្រូវអាបត្តិបារាជិកទាំងពីរនាក់ ។ ភិក្ខុអ្នកទទួលបង្គាប់ទៅលួចទ្រព្យនោះបានមកមុននិមិត្តនោះក្តី ក្រោយក្តី ភិក្ខុអ្នកបង្គាប់ដើម មិនត្រូវអាបត្តិឡើយ ត្រូវអាបត្តិបារាជិកតែភិក្ខុអ្នកលួច ។

(១៦១) ភិក្ខុបង្គាប់ភិក្ខុដទៃថា អ្នកចូរលួចទ្រព្យឈ្មោះនេះមក ភិក្ខុអ្នកប្រើនោះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកទទួលបង្គាប់នោះសំគាល់ទ្រព្យនោះបានហើយ ទៅលួចទ្រព្យនោះបានមក ត្រូវអាបត្តិបារាជិកទាំងពីរនាក់ ។ ភិក្ខុបង្គាប់ភិក្ខុដទៃថា អ្នកចូរលួចទ្រព្យឈ្មោះនេះមក ភិក្ខុអ្នកប្រើនោះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកទទួលបង្គាប់នោះសំគាល់ទ្រព្យនោះបានហើយ ទៅលួចទ្រព្យដទៃបានមកវិញ ភិក្ខុអ្នកបង្គាប់ដើម មិនត្រូវអាបត្តិឡើយ ត្រូវអាបត្តិបារាជិកតែភិក្ខុអ្នកលួច ។ ភិក្ខុបង្គាប់ភិក្ខុដទៃថា អ្នកចូរលួចទ្រព្យឈ្មោះនេះមក ភិក្ខុអ្នកប្រើនោះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកទទួលបង្គាប់នោះ ក្រឡប់សំគាល់ទ្រព្យដទៃវិញ តែទៅលួចទ្រព្យ

អវហារកោ បដិគ្គណ្ហាតិ អាបត្តិ ទុក្កដស្ស ។ សោ តំ ភណ្ឌំ អវហរតិ មូលដ្ឋស្ស អនាបត្តិ អាណាបកស្ស ច អវហារកស្ស ច អាបត្តិ បារាជិកស្ស ។ ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ភណ្ឌំ អវហរាតិ អាបត្តិ ទុក្កដស្ស ។ សោ គន្ត្វា បុន បច្ចាគច្ឆតិ នាហំ សក្កោមិ តំ ភណ្ឌំ អវហរិតុន្តិ ។ សោ បុន អាណាបេតិ យទា សក្កោសិ តទា តំ ភណ្ឌំ អវហរាតិ អាបត្តិ ទុក្កដស្ស ។ សោ តំ ភណ្ឌំ អវហរតិ អាបត្តិ ឧភិន្នំ បារាជិកស្ស ។ ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ភណ្ឌំ អវហរាតិ អាបត្តិ ទុក្កដស្ស សោ តំ អាណាបេត្វា វិប្បដិសារី ន សាវេតិ មា អវហរីតិ សោ តំ ភណ្ឌំ អវហរតិ អាបត្តិ ឧភិន្នំ បារាជិកស្ស ។ ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ភណ្ឌំ អវហរាតិ អាបត្តិ ទុក្កដស្ស ។ សោ តំ អាណាបេត្វា វិប្បដិសារី



ទី ៣ ទទួលនឹងទៅលួច អ្នកទទួលបង្គាប់ទី ៣ នោះត្រូវអាបត្តិទុក្កដក្នុងខណៈទទួល ។ អ្នកទទួលបង្គាប់ទី ៣ នោះទៅលួចទ្រព្យនោះបានមក អ្នកប្រើដើមមិនត្រូវអាបត្តិឡើយ ត្រូវអាបត្តិបារាជិកតែភិក្ខុអ្នកទទួលបង្គាប់ទី ១ នឹងភិក្ខុអ្នកលួចទី ៣ ។ ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរទៅលួចយកទ្រព្យឈ្មោះនេះមក ភិក្ខុអ្នកប្រើនោះ ត្រូវអាបត្តិទុក្កដក្នុងខណៈប្រើ ។ ភិក្ខុអ្នកទទួលបង្គាប់នោះទៅហើយត្រឡប់មកវិញប្រាប់ថា ខ្ញុំមិនអាចនឹងទៅលួចយកទ្រព្យនោះមកទេ ។ ភិក្ខុអ្នកបង្គាប់ប្រើម្ដងទៀតថា លោកអាចលួចយកបានក្នុងវេលាណា ចូរលួចទ្រព្យនោះក្នុងវេលានោះចុះ ភិក្ខុអ្នកបង្គាប់នោះត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកទទួលបង្គាប់លួចយកទ្រព្យនោះបានមក ត្រូវអាបត្តិបារាជិកទាំងពីរនាក់ ។ ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរលួចយកទ្រព្យឈ្មោះនេះមក ភិក្ខុអ្នកប្រើនោះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកបង្គាប់នោះ លុះដល់បង្គាប់ភិក្ខុនោះហើយ មានសេចក្ដីក្ដៅក្រហាយក្នុងក្រោយវិញ តែមិនបានប្រាប់ភិក្ខុនោះថា អ្នកកុំលួចឡើយ ភិក្ខុអ្នកទទួលបង្គាប់នោះទៅលួចទ្រព្យនោះបានមក ត្រូវអាបត្តិបារាជិកទាំងពីរនាក់ ។ ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរទៅលួចយកទ្រព្យឈ្មោះនេះមក ភិក្ខុអ្នកបង្គាប់នោះ ត្រូវអាបត្តិទុក្កដក្នុងខណៈបង្គាប់ ។ ភិក្ខុអ្នកបង្គាប់នោះ លុះដល់បង្គាប់ភិក្ខុនោះហើយ មានសេចក្ដីក្ដៅក្រហាយ

(១៦៦) បញ្ចហាការេហិ អទិន្នំ អាទិយន្តស្ស អាបត្តិ ទុក្កដស្ស ន ច បរបរិគ្គហិតំ ហោតិ បរបរិគ្គហិតសញ្ញី ច គរុកោ ច ហោតិ បរិក្ខារោ បញ្ចមាសកោ វា អតិរេកបញ្ចមាសកោ វា ថេយ្យចិត្តញ្ច បច្ចុបដ្ឋិតំ ហោតិ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ទុក្កដស្ស ។ ឋានា ចាវេតិ អាបត្តិ ទុក្កដស្ស ។ បញ្ចហាការេហិ អទិន្នំ អាទិយន្តស្ស អាបត្តិ ទុក្កដស្ស ន ច បរបរិគ្គហិតំ ហោតិ បរបរិគ្គហិតសញ្ញី ច លហុកោ ច ហោតិ បរិក្ខារោ អតិរេកមាសកោ វា ឩនបញ្ចមាសកោ វា ថេយ្យចិត្តញ្ច បច្ចុបដ្ឋិតំ ហោតិ អាមសតិ អាបត្តិ ទុក្កដស្ស ។ ផន្ទាបេតិ អាបត្តិ ទុក្កដស្ស ។ ឋានា ចាវេតិ អាបត្តិ ទុក្កដស្ស ។ បញ្ចហាការេហិ អទិន្នំ អាទិយន្តស្ស អាបត្តិ ទុក្កដស្ស ន ច បរបរិគ្គហិតំ ហោតិ បរបរិគ្គហិតសញ្ញី ច លហុកោ ច ហោតិ បរិក្ខារោ មាសកោ វា ឩនមាសកោ វា ថេយ្យចិត្តញ្ច បច្ចុបដ្ឋិតំ ហោតិ



(១៦៦) ភិក្ខុកាន់យកទ្រព្យដែលម្ចាស់របស់មិនបានឲ្យដោយអាការ ៥ យ៉ាង ត្រូវអាបត្តិទុក្កដ គឺទ្រព្យដែលអ្នកដទៃមិនបានហួងហែងរក្សា ១ សំគាល់ថាជាទ្រព្យមានអ្នកដទៃហួងហែងរក្សា ១ បរិក្ខារមានថ្លៃច្រើនប្រមាណ ៥ មាសក ឬលើសអំពី ៥ មាសក ១ មានថេយ្យចិត្តកើតឡើងប្រាកដ ១ ញុំាងទ្រព្យនោះឲ្យឃ្លាតចាកទីតាំង ១ ត្រូវអាបត្តិទុក្កដ ។ (បើមិនទាន់ឲ្យឃ្លាតចាកទីទេ) ភិក្ខុចាប់ពាល់ ក៏ត្រូវអាបត្តិទុក្កដ ។ ញុំាងទ្រព្យនោះឲ្យកំរើក ក៏ត្រូវអាបត្តិទុក្កដ ។ ភិក្ខុកាន់យកទ្រព្យដែលម្ចាស់របស់មិនបានឲ្យដោយអាការ ៥ យ៉ាង ត្រូវអាបត្តិទុក្កដ គឺទ្រព្យដែលអ្នកដទៃមិនបានហួងហែងរក្សា ១ សំគាល់ថាទ្រព្យមានអ្នកដទៃហួងហែងរក្សា ១ បរិក្ខារមានថ្លៃតិចប្រមាណលើសអំពី ១ មាសក ឬថយពី ៥ មាសកចុះមក ១ មានថេយ្យចិត្តកើតឡើងប្រាកដ ១ ញុំាងទ្រព្យនោះឲ្យឃ្លាតចាកទីតាំង ១ ត្រូវអាបត្តិទុក្កដ ។ (បើមិនទាន់ឲ្យឃ្លាតចាកទីទេ) ភិក្ខុចាប់ពាល់ ក៏ត្រូវអាបត្តិទុក្កដ ។ ញុំាងទ្រព្យនោះឲ្យកំរើក ក៏ត្រូវអាបត្តិទុក្កដ ។ ភិក្ខុកាន់យកទ្រព្យដែលម្ចាស់របស់មិនបានឲ្យដោយអាការ ៥ យ៉ាង ត្រូវអាបត្តិទុក្កដ គឺទ្រព្យដែលអ្នកដទៃមិនបានហួងហែងរក្សា ១ សំគាល់ថាទ្រព្យមានអ្នកដទៃហួងហែងរក្សា ១ បរិក្ខារមានថ្លៃតិចប្រមាណ ១ មាសក ឬថយពី ១ មាសកចុះមក ១ មានថេយ្យចិត្តកើតឡើងប្រាកដ ១

តេសំ កុក្កុច្ចំ អហោសិ ភគវតា សិក្ខាបទំ បញ្ញត្តំ កច្ចិ នុ ខោ មយំ បារាជិកំ អាបត្តឹ អាបន្នាតិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អាបត្តឹ តុម្ហេ ភិក្ខវេ អាបន្នា បារាជិកន្តិ ។

(១៦៩) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ រជកត្ថរណំ គន្ត្វា មហគ្ឃំ ទុស្សំ បស្សិត្វា ថេយ្យចិត្តំ ឧប្បាទេសិ ។ តស្ស កុក្កុច្ចំ អហោសិ កច្ចិ នុ ខោ អហំ បារាជិកំ អាបត្តឹ អាបន្នោតិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អនាបត្តិ ភិក្ខុ ចិត្តុប្បាទេតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ រជកត្ថរណំ គន្ត្វា មហគ្ឃំ ទុស្សំ បស្សិត្វា ថេយ្យចិត្តោ អាមសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ រជកត្ថរណំ គន្ត្វា មហគ្ឃំ ទុស្សំ បស្សិត្វា ថេយ្យចិត្តោ ផន្ទាបេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។



ភិក្ខុទាំងឡាយនោះមានសេចក្ដីសង្ស័យថា សិក្ខាបទព្រះដ៏មានព្រះភាគទ្រង់បញ្ញត្តហើយ យើងទាំងឡាយត្រូវអាបត្តិបារាជិកហើយឬហ្ន៎ ។ ទើបក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយត្រូវអាបត្តិបារាជិកហើយ ។

(១៦៩) សម័យនោះ មានភិក្ខុ ១ រូបទៅកាន់កន្លែងហាលភណ្ឌ នៃជាងជ្រលក់ បានឃើញសំពត់មានថ្លៃច្រើន ហើយញ៉ាំងថេយ្យចិត្តឲ្យកើតឡើង ។ ភិក្ខុនោះមានសេចក្ដីសង្ស័យថា អញត្រូវអាបត្តិបារាជិកហើយឬហ្ន៎ ។ ទើបក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ បើថេយ្យចិត្តកើតឡើងប៉ុណ្ណោះ អ្នកមិនត្រូវអាបត្តិឡើយ ។ សម័យនោះ មានភិក្ខុ ១ រូបទៅកាន់កន្លែងហាលភណ្ឌៈនៃជាងជ្រលក់ ឃើញសំពត់មានថ្លៃច្រើនមានថេយ្យចិត្តនឹកលួចហើយ ចាប់ពាល់សំពត់នោះ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិទុក្កដ ។ សម័យនោះឯង មានភិក្ខុ ១ រូបទៅកាន់កន្លែងហាលភណ្ឌៈនៃជាងជ្រលក់ បានឃើញសំពត់មានថ្លៃច្រើន មានថេយ្យចិត្តនឹកលួច ហើយធ្វើសំពត់នោះឲ្យកំរើក ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។

អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ រជកត្ថរណំ គន្ត្វា មហគ្ឃំ ទុស្សំ បស្សិត្វា ថេយ្យចិត្តោ ឋានា ចាវេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តិំ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(១៦៥) តេន ខោ បន សមយេន អញ្ញតរោ បិណ្ឌចារិកោ ភិក្ខុ មហគ្ឃំ ឧត្តរត្ថរណំ បស្សិត្វា ថេយ្យចិត្តំ ឧប្បាទេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ ចិត្តុប្បាទេតិ ។ តេន ខោ បន សមយេន អញ្ញតរោ បិណ្ឌចារិកោ ភិក្ខុ មហគ្ឃំ ឧត្តរត្ថរណំ បស្សិត្វា ថេយ្យចិត្តោ អាមសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។ បេ ។ ថេយ្យចិត្តោ ផន្ទាបេសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ បេ ។



ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង មានភិក្ខុ ១ រូបទៅកាន់កន្លែងហាលកណ្ណាះនៃជាងជ្រលក់ បានឃើញសម្ពត់មានតម្លៃច្រើន មានថេយ្យចិត្តគិតលួច ហើយញុំាងសម្ពត់នោះឲ្យឃ្លាតចុះចាកទី ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

(១៦៥) សម័យនោះឯង មានភិក្ខុ ១ រូបអ្នកត្រាច់ទៅបិណ្ឌបាត បានឃើញកំរាលដ៏ប្រសើរមានតម្លៃច្រើន ហើយញុំាងថេយ្យចិត្តឲ្យកើតឡើង ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ បើថេយ្យចិត្តកើតឡើងប៉ុណ្ណោះ អ្នកមិនត្រូវអាបត្តិឡើយ ។ សម័យនោះឯង មានភិក្ខុ ១ រូបអ្នកត្រាច់ទៅបិណ្ឌបាត បានឃើញកំរាលដ៏ប្រសើរមានតម្លៃច្រើន មានថេយ្យចិត្តគិតលួចហើយចាប់ពាល់ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិទុក្កដ ។ បេ ។ ភិក្ខុមានថេយ្យចិត្ត ញ៉ើបកំរាលនោះឲ្យកំរើក ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិថុល្លច្ច័យ ។ បេ ។

ថេយ្យចិត្តោ ហរតិ ជាតេសុ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

[១៣០] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ទិវា ភណ្ឌំ បស្សិត្វា និមិត្តំ អកាសិ រត្តឹ អវហរិស្សាមីតិ ។ សោ តំ មញ្ញមានោ តំ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។បេ។ តំ មញ្ញមានោ អញ្ញំ អវហរិ ។បេ។ អញ្ញំ មញ្ញមានោ តំ អវហរិ ។បេ។ អញ្ញំ មញ្ញមានោ អញ្ញំ អវហរិ ។បេ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ទិវា ភណ្ឌំ បស្សិត្វា និមិត្តំ អកាសិ រត្តឹ អវហរិស្សាមីតិ ។ សោ តំ(១) មញ្ញមានោ

១ ម. អញ្ញំ ។



ភិក្ខុមានថេយ្យចិត្តញ៉ាំងរបស់នោះឲ្យឃ្លាតផុតពីកន្លែង ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

[១៣០] សម័យនោះឯង មានភិក្ខុ ១ រូប ឃើញទ្រព្យក្នុងវេលាថ្ងៃ ហើយបានធ្វើនិមិត្តសំគាល់ថា អាត្មានឹងលួចយកទ្រព្យនោះក្នុងវេលាយប់ ។ ភិក្ខុនោះកាលបើសំគាល់ទ្រព្យនោះបានហើយ ក៏លួចយកទ្រព្យនោះមក ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។បេ។ ភិក្ខុសំគាល់ទ្រព្យនោះបាន (ក្នុងវេលាថ្ងៃហើយ ដល់វេលាយប់) លួចយកទ្រព្យដទៃបានមកវិញ ។បេ។ (វេលាថ្ងៃ) សំគាល់ទ្រព្យដទៃ (តែដល់វេលាយប់) ត្រឡប់លួចបានទ្រព្យនោះមក ។បេ។ សំគាល់ទ្រព្យដទៃបានហើយ ទៅលួចយកទ្រព្យដទៃបានមក ។បេ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានភិក្ខុ ១ រូប ឃើញទ្រព្យក្នុងវេលាថ្ងៃ ហើយបានធ្វើនិមិត្តសំគាល់ថា អាត្មានឹងលួចយកទ្រព្យនោះក្នុងវេលាយប់ ។ ភិក្ខុនោះសំគាល់ទ្រព្យនោះបានហើយ

អត្តនោ ភណ្ឌំ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។

[១៣១] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អញ្ញស្ស ភណ្ឌំ ហរន្តោ សីសេ ភារំ ថេយ្យចិត្តោ អាមសិ ។បេ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។បេ។ ថេយ្យចិត្តោ ផន្ទាបេសិ ។បេ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។បេ។ ថេយ្យចិត្តោ ខន្ធំ ឱរោបេសិ ។បេ។ អាបត្តិំ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។បេ។ ខន្ធេ ភារំ ថេយ្យចិត្តោ អាមសិ ។បេ។ ថេយ្យចិត្តោ ផន្ទាបេសិ ។បេ។ ថេយ្យចិត្តោ កដឹ ឱរោបេសិ ។បេ។ កដិយា ភារំ ថេយ្យចិត្តោ អាមសិ ។បេ។



(វាលាយប់) ត្រឡប់លួចបានទ្រព្យរបស់ខ្លួនមកវិញ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិទុក្កដ ។

(១៣១) សម័យនោះឯង មានភិក្ខុ១រូប ទូលនាំយកទ្រព្យរបស់អ្នកដទៃទៅឲ្យគេ (វែលាក់ក្នុងដើរ) កើតមានថេយ្យចិត្ត ហើយចាប់ពាល់របស់គេដែលនៅលើក្បាល ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិទុក្កដ ។បេ។ ភិក្ខុមានថេយ្យចិត្ត ហើយធ្វើរបស់នោះឲ្យកំរើក ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិថុល្លច្ច័យ ។បេ។ ភិក្ខុមានថេយ្យចិត្តគិតលួច ហើយដាក់របស់ចុះមកត្រឹមក ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។បេ។ ភិក្ខុមានថេយ្យចិត្តគិតលួច ហើយចាប់ពាល់ភារៈដែលតាំងនៅលើក ។បេ។ ភិក្ខុមានថេយ្យចិត្តគិតលួច ហើយធ្វើភារៈ[1]នោះឲ្យកំរើក ។បេ។ ភិក្ខុមានថេយ្យចិត្តគិតលួច ហើយដាក់ភារៈចុះមកត្រឹមចង្កេះ ។បេ។ ភិក្ខុមានថេយ្យចិត្តគិតលួច ហើយចាប់ពាល់ភារៈដែលតាំងនៅលើចង្កេះ ។បេ។

១ បានដល់របស់ដែលគេតាំងទៅ ដោយអាស្រ័យនឹងក្បាលជាដើម គឺត្រូវទូលឬលីប្រាក ។

តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ បីឋេ ចីវរំ និក្ខិបិត្វា ។ បេ ។ បីឋេ និសីទនំ និក្ខិបិត្វា ។ បេ ។ ហេដ្ឋាបីឋេ បត្តំ និក្ខិបិត្វា វិហារំ បាវិសិ ។ អញ្ញតរោ ភិក្ខុ មាយំ បត្តោ នស្សីតិ បដិសាមេសិ ។ សោ និក្ខមិត្វា តំ ភិក្ខុំ បុច្ឆិ អាវុសោ មយ្ហំ បត្តោ កេន អវហដោតិ ។ សោ បរិហារ មយា អវហដោតិ ។ សោ តំ អាទិយិ អស្សមណោសិ ត្វន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ និរុត្តិប-ថេតិ ។ តេន ខោ បន សមយេន អញ្ញតរា ភិក្ខុនី វតិយា ចីវរំ បត្ថរិត្វា វិហារំ បាវិសិ ។ អញ្ញតរា ភិក្ខុនី មាយិទំ ចីវរំ នស្សីតិ បដិសាមេ-សិ ។ សា និក្ខមិត្វា តំ ភិក្ខុនឹ បុច្ឆិ អយ្យេ មយ្ហំ ចីវរំ កេន អវហដន្តិ ។ សា បរិហារ មយា អវហដន្តិ ។ សា តំ អាទិយិ អស្សមណីសិ ត្វន្តិ ។



សម័យនោះ មានភិក្ខុ ១ រូប ទុកដាក់ចីវរលើតាំង ។ បេ ។ ទុកដាក់សំពត់និសីទនលើតាំង ។ បេ ។ ទុកដាក់បាត្រក្រោមតាំង ហើយចូលទៅកាន់វិហារ ។ មានភិក្ខុឯទៀតទុកដាក់បាត្រនោះ ដោយគិតថា កុំឲ្យបាត្រនេះបាត់ទៅឡើយ ។ ភិក្ខុម្ចាស់បាត្រនោះចេញពីវិហារហើយ ទៅសួរភិក្ខុនោះថា អាវុសោ បាត្ររបស់ខ្ញុំលោកណាលួចយកទៅ ។ ភិក្ខុនោះពោលតបយ៉ាងនេះថា (បាត្ររបស់លោក) យើងលួចយកហើយ ។ ភិក្ខុម្ចាស់បាត្រចាប់ប្រកាន់ភិក្ខុនោះថា លោកមិនមែនជាសម-ណទេ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ បើគ្រាន់តែពោលពាក្យទេ មិនត្រូវអាបត្តិឡើយ ។ ស-ម័យនោះឯង មានភិក្ខុនី ១ រូប ហាលចីវរនឹងរបង ហើយចូលទៅកាន់វិហារ ។ មានភិក្ខុនីឯទៀតទុកដាក់ចីវរនោះដោយគិតថា កុំឲ្យចីវរនេះបាត់ទៅឡើយ ។ ភិក្ខុនីជាម្ចាស់ចីវរនោះចេញពីវិហារទៅ ហើយសួរភិក្ខុនីនោះថា នាង ចីវររបស់ខ្ញុំអ្នកណាលួចយកចុះទៅ ។ ភិក្ខុនីនោះពោលតបយ៉ាងនេះថា (ចីវរនាង) យើងលួចយកហើយ ។ ភិក្ខុនីម្ចាស់ចីវរនោះចាប់ប្រកាន់ភិក្ខុនីនោះថា នាងមិនមែនជាសមណីទេ ។

អស្សមណោសិ ត្វន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ កឹចិត្តោ ត្វំ ភិក្ខូតិ ។ ថេយ្យចិត្តោ អហំ ភគវាតិ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(១៣៤) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សុសានំ គន្ត្វា អភិន្នេ សរីរេ បំសុកូលំ អគ្គហេសិ ។ តស្មិំ ច សរីរេ បេតោ អធិវត្ថោ ហោតិ ។ អថខោ សោ បេតោ តំ ភិក្ខុំ ឯតទវោច មា ភន្តេ មយ្ហំ សាដកំ អគ្គហេសីតិ ។ សោ ភិក្ខុ អនាទិយន្តោ អគ្គហេសិ(១) ។ អថខោ តំ សរីរំ ឧដ្ឋហិត្វា តស្ស ភិក្ខុនោ បិដ្ឋិតោ បិដ្ឋិតោ អនុពន្ធិ ។ អថខោ សោ ភិក្ខុ វិហារំ បវិសិត្វា ទ្វារំ ថកេសិ ។ អថខោ តំ សរីរំ តត្ថេវ បតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស ន ច ភិក្ខវេ អភិន្នេ សរីរេ បំសុកូលំ គហេតព្វំ យោ គណ្ហេយ្យ អាបត្តិ ទុក្កដស្សាតិ ។

១ ម.ឆ. អគ្គហេសិ ។



ប្រាប់ភិក្ខុនោះថា លោកមិនមែនជាសមណៈទេ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមានចិត្តគិតដូចម្តេច ។ ភិក្ខុនោះក្រាបបង្គំទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមានថេយ្យចិត្តមែន ។ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

(១៣៤) សម័យនោះឯង មានភិក្ខុ ១ រូបទៅកាន់ទីស្មសាន ហើយបានកាន់យកសំពត់បំសុកូលអំពីសរីរៈខ្មោចដែលមិនទាន់បែកធ្លាយ ។ ក៏ក្នុងសរីរៈខ្មោចនោះមានប្រេតមកអាស្រ័យនៅ ។ គ្រានោះ ប្រេតនោះបាននិយាយនឹងភិក្ខុនោះយ៉ាងនេះថា បពិត្រលោកដ៏ចំរើន លោកកុំយកសាដករបស់ខ្ញុំឡើយ ។ ភិក្ខុនោះមិនអើពើនឹងពាក្យប្រេតនោះ ក៏ចេះតែកាន់យកទៅ ។ ខណៈនោះសរីរៈនោះក៏ក្រោកឡើង ហើយដើរជាប់តាមក្រោយខ្នងភិក្ខុនោះ ។ លំដាប់នោះឯង ភិក្ខុនោះក៏ចូលទៅកាន់វិហារ ហើយបិទទ្វារ ។ សរីរៈនោះ ក៏ដួលរលំក្នុងទីនោះឯង ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ម្នាលភិក្ខុទាំងឡាយ តែថា ភិក្ខុកុំគប្បីកាន់យកសំពត់បំសុកូលអំពីសរីរៈខ្មោចដែលមិនទាន់បែកធ្លាយ ភិក្ខុណាកាន់យក ភិក្ខុនោះ ត្រូវអាបត្តិទុក្កដ ។

[១៣៥] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សង្ឃស្ស ចីវរេ ភាជិយមានេ ថេយ្យចិត្តោ កុសំ សង្កាមេត្វា ចីវរំ អគ្គហេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

[១៣៦] តេន ខោ បន សមយេន អាយស្មា អានន្ទោ ជន្តាឃរេ អញ្ញតរស្ស ភិក្ខុនោ អន្តរវាសកំ អត្តនោ មញ្ញមានោ និវាសេសិ ។ អថខោ សោ ភិក្ខុ អាយស្មន្តំ អានន្ទំ ឯតទវោច កិស្ស មេ ត្វំ អាវុសោ អានន្ទ អន្តរវាសកំ និវាសេសីតិ ។ សកសញ្ញី អហំ អាវុសោតិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អនាបត្តិ ភិក្ខវេ សកសញ្ញិស្សាតិ ។

[១៣៧] តេន ខោ បន សមយេន សម្ពហុលា ភិក្ខូ គិជ្ឈកូដា បព្វតា ឱរោហន្តា សីហវិឃាសំ បស្សិត្វា បចាបេត្វា បរិភុញ្ជឹសុ ។ តេសំ កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អនាបត្តិ ភិក្ខវេ សីហវិឃាសេតិ ។ តេន ខោ បន សមយេន សម្ពហុលា ភិក្ខូ គិជ្ឈកូដា បព្វតា ឱរោហន្តា



(១៣៥) សម័យនោះឯង មានភិក្ខុ១រូប កាលគេកំពុងចែកចីវរដើម្បីសង្ឃ មានថេយ្យចិត្តគិតលួច ហើយបានផ្លាស់ស្លាកខុស លួចយកចីវរភិក្ខុដទៃ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

(១៣៦) សម័យនោះឯង ព្រះអានន្ទដ៏មានអាយុស្លៀកសំពត់ស្បង់របស់ភិក្ខុដទៃថាជារបស់ខ្លួន ហើយស្លៀកក្នុងរោងភ្លើង ។ គ្រានោះឯង ភិក្ខុម្ចាស់ស្បង់នោះ បានសួរព្រះអានន្ទដ៏មានអាយុយ៉ាងនេះថា ម្នាលអាវុសោ អានន្ទ ហេតុអ្វីបានជាលោកស្លៀកស្បង់របស់ខ្ញុំ ។ ព្រះអានន្ទនិយាយតបថា អាវុសោ ខ្ញុំសំគាល់ថាជារបស់ខ្ញុំ ។ ពួកភិក្ខុក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អាបត្តិមិនមានដល់ភិក្ខុអ្នកកាន់យករបស់សំគាល់ថា ជារបស់ខ្លួនទេ ។

(១៣៧) សម័យនោះឯង ភិក្ខុទាំងឡាយច្រើនរូប ចុះចាកភ្នំគិជ្ឈកូដបានឃើញគោសត្វសីហ៍ ហើយយកមកចំអិនបរិភោគឆាន់ ។ ភិក្ខុទាំងនោះមានសេចក្ដីសង្ស័យ ទើបនាំគ្នាក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ ការឆាន់ពាសត្វសីហ៍មិនត្រូវអាបត្តិទេ ។ សម័យនោះឯង ភិក្ខុទាំងឡាយច្រើនរូប ចុះ

អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ សម្បជានមុសាវាទេ បាចិត្តិយស្សាតិ ។

[១៣៩] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ទុព្ភិក្ខេ ឱទនិយឃរំ បវិសិត្វា បត្តបូរំ ឱទនំ ថេយ្យចិត្តោ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ទុព្ភិក្ខេ សូនឃរំ បវិសិត្វា បត្តបូរំ មំសំ ថេយ្យចិត្តោ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ទុព្ភិក្ខេ បូវឃរំ បវិសិត្វា បត្តបូរំ បូវំ ថេយ្យចិត្តោ អវហរិ ។បេ។ បត្តបូរំ សក្ខលិយោ ថេយ្យចិត្តោ អវហរិ ។បេ។ បត្តបូរំ មោទកេ ថេយ្យចិត្តោ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។



ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិបាចិត្តិយ ព្រោះដឹងខ្លួនហើយពោលពាក្យកុហកមុសា ។

[១៣៩] សម័យនោះឯង មានភិក្ខុ១រូប ចូលទៅកាន់ផ្ទះដែលគេដាំបាយ គឺវេលាស្រេកអត់បាយ មានថេយ្យចិត្តហើយបានលួចយកបាយពេញ១បាត្រ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានភិក្ខុ១រូប ចូលទៅកាន់ផ្ទះសម្រាប់ពិឃាតសាច់លក់ គឺវេលាស្រេកអត់បាយ ហើយមានថេយ្យចិត្តលួចយកសាច់ដាក់ពេញ១បាត្រ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានភិក្ខុ១រូប ចូលទៅកាន់ផ្ទះធ្វើនំ គឺវេលាស្រេកអត់បាយ ហើយមានថេយ្យចិត្តបានលួចយកនំដាក់ពេញ១បាត្រ ។បេ។ មានថេយ្យចិត្តហើយលួចយកនំក្រៀបដាក់ពេញ១បាត្រ ។បេ។ មានថេយ្យចិត្តហើយបានលួចយកនំអន្សមដាក់ពេញ១បាត្រ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

(១៦០) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ទិវា បរិក្ខារំ បស្សិត្វា និមិត្តំ អកាសិ រត្តឹ អវហរិស្សាមីតិ ។ សោ តំ មញ្ញមានោ តំ អវហរិ ។ បេ ។ តំ មញ្ញមានោ អញ្ញំ អវហរិ ។ បេ ។ អញ្ញំ មញ្ញមានោ តំ អវហរិ ។ បេ ។ អញ្ញំ មញ្ញមានោ អញ្ញំ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ទិវា បរិក្ខារំ បស្សិត្វា និមិត្តំ អកាសិ រត្តឹ អវហរិស្សាមីតិ ។ សោ តំ(១) មញ្ញមានោ អត្តនោ បរិក្ខារំ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។

(១៦១) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ បីឋេ(២) ថវិកំ បស្សិត្វា ឥតោ គណ្ហន្តោ បារាជិកោ ភវិស្សាមីតិ សហ បីឋកេន សង្កាមេត្វា អវហាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

១ ម. ឆ. អញ្ញំ ។ ២ ម. ឆ. បីឋេ ថវិកំ ។



[១៦០] សម័យនោះឯង មានភិក្ខុ ១ រូប ឃើញបរិក្ខារគេ វេលាថ្ងៃ ហើយធ្វើនិមិត្តទុកថា អាត្មាអញនឹងលួចយកក្នុងវេលាយប់ ។ ភិក្ខុនោះសំគាល់របស់នោះថាជារបស់នោះហើយ លួចយករបស់នោះនាំមក ។ បេ ។ សំគាល់របស់នោះថាជារបស់នោះហើយ លួចបានរបស់ដទៃមកវិញ ។ បេ ។ សំគាល់របស់ដទៃ ត្រឡប់លួចបានរបស់នោះមកវិញ ។ បេ ។ សំគាល់របស់ដទៃ លួចបានរបស់ដទៃមក ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានភិក្ខុ ១ រូប ឃើញបរិក្ខារក្នុងវេលាថ្ងៃ ហើយបានធ្វើនិមិត្តទុកថា អាត្មាអញនឹងលួចយកក្នុងវេលាយប់ ។ ភិក្ខុនោះសំគាល់របស់នោះថាជារបស់នោះហើយ ត្រឡប់លួចបានបរិក្ខាររបស់ខ្លួនឯងមកវិញ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិទុក្កដ ។

[១៦១] សម័យនោះឯង មានភិក្ខុ ១ រូប ឃើញថង់យាមនៅលើតាំង ហើយគិតថា កាលអាត្មាអញយកថង់យាមអំពីទីនេះ មុខជានឹងត្រូវអាបត្តិបារាជិក ហើយក៏លើកយកថង់យាមនោះព្រមទាំងតាំងទៅផង ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

សង្ឃស្ស លពុជំ ។បេ។ សង្ឃស្ស បនសំ ។បេ។ សង្ឃស្ស តាលបក្កំ ។បេ។ សង្ឃស្ស ឧច្ឆុំ ។បេ។ សង្ឃស្ស តិម្ពរូសកំ ថេយ្យចិត្តោ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(១៨០) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ បុប្ផារាមំ គន្ត្វា ឱចិតំ បុប្ផំ បញ្ចមាសកគ្ឃនកំ ថេយ្យចិត្តោ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ បុប្ផារាមំ គន្ត្វា បុប្ផំ ឱចិនិត្វា បញ្ចមាសកគ្ឃនកំ ថេយ្យចិត្តោ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(១៨១) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គាមកំ គច្ឆន្តោ អញ្ញតរំ ភិក្ខុំ ឯតទវោច អាវុសោ តុយ្ហំ ឧបដ្ឋាកកុលំ វុត្តោ វជ្ជេមីតិ ។ សោ គន្ត្វា ឯកំ សាដកំ អាហរាបេត្វា អត្តនា បរិភុញ្ជិ ។



លួចយកផ្លែខ្នុរស៊ីឡូរបស់សង្ឃ ។បេ។ លួចយកផ្លែខ្នុរណាំងរបស់សង្ឃ ។បេ។ លួចយកផ្លែត្នោតទុំរបស់សង្ឃ ។បេ។ លួចយកអំពៅរបស់សង្ឃ ។បេ។ មានថេយ្យចិត្តហើយលួចយកផ្លែទន្លាប់របស់សង្ឃ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

(១៨០) សម័យនោះឯង មានភិក្ខុ ១ រូបទៅកាន់សួនផ្កា ហើយមានថេយ្យចិត្តលួចយកផ្កាមានថ្លៃ ៥ មាសកដែលម្ចាស់គេបានបេះទុក ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានភិក្ខុ ១ រូបទៅកាន់សួនផ្កា ហើយមានថេយ្យចិត្តលួចបេះផ្កាមានថ្លៃ ៥ មាសក ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

(១៨១) សម័យនោះឯង មានភិក្ខុ ១ រូបទៅកាន់ស្រុកតូចមួយ ហើយបាននិយាយនឹងភិក្ខុ ១ រូបថា អាវុសោ លោកផ្តាំខ្ញុំហើយ ខ្ញុំនឹងទៅប្រាប់ត្រកូលជាឧបដ្ឋាករបស់លោក ។ ភិក្ខុនោះទៅហើយបានឲ្យត្រកូលនោះយកសំពត់សាដក ១ មក ហើយប្រើប្រាស់ដោយខ្លួនឯង ។

អនាបត្តិ អជានន្តស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ បុរិសោ មហគ្ឃំ មណឹ អាទាយ អញ្ញតរេន ភិក្ខុនា សទ្ធឹ អទ្ធានមគ្គប្បដិបន្នោ ហោតិ ។ អថខោ សោ បុរិសោ សុង្កដ្ឋានំ បស្សិត្វា គិលានាលយំ ករិត្វា អត្តនោ ភណ្ឌិកំ តស្ស ភិក្ខុនោ អទាសិ ។ អថខោ សោ បុរិសោ សុង្កដ្ឋានំ អតិក្កមិត្វា តំ ភិក្ខុំ ឯតទវោច អាហរ មេ ភន្តេ ភណ្ឌិកំ នាហំ អហោសឹ គិលានោតិ ។ កិស្ស បន ត្វំ អាវុសោ ឯវរូបំ អកាសីតិ ។ អថខោ សោ បុរិសោ តស្ស ភិក្ខុនោ អារោចេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ កឹចិត្តោ ត្វំ ភិក្ខូតិ ។ នាហំ ភគវា ជានាមីតិ ។ អនាបត្តិ ភិក្ខុ អជានន្តស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សត្ថេន សទ្ធឹ អទ្ធានមគ្គប្បដិបន្នោ ហោតិ ។ អញ្ញតរោ បុរិសោ តំ ភិក្ខុំ អាមិសេន ឧបលាបេត្វា សុង្កដ្ឋានំ បស្សិត្វា មហគ្ឃំ មណឹ តស្ស ភិក្ខុនោ អទាសិ ឥមំ ភន្តេ មណឹ សុង្កដ្ឋានំ អតិក្កាមេហីតិ ។



បានដឹងសោះឡើយ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អាបត្តិមិនមានដល់ភិក្ខុអ្នកមិនដឹង ។ សម័យនោះឯង បុរសម្នាក់នាំយកកែវមណីមានតំលៃច្រើនដើរទៅកាន់ផ្លូវឆ្ងាយជាមួយនឹងភិក្ខុឯទៀត ។ លំដាប់នោះ បុរសនោះឃើញទីគយហើយ ក៏ធ្វើជាការហាក់ដូចជាឈឺ ហើយបានប្រគល់បង្វិចកែវមណីរបស់ខ្លួនដល់ភិក្ខុនោះ ។ គ្រានោះឯង បុរសនោះដើររំលងហួសទីគយទៅហើយ បាននិយាយពាក្យនេះនឹងភិក្ខុនោះថា បពិត្រលោកម្ចាស់ សូមលោកយកបង្វិចរបស់ខ្ញុំមក ខ្ញុំមិនឈឺទេ ។ ភិក្ខុនោះសួរថា អាវុសោ ចុះហេតុអ្វីបានជាអ្នកធ្វើអាការយ៉ាងនេះ ។ ទើបបុរសនោះប្រាប់សេចក្តីនុះដល់ភិក្ខុនោះ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកគិតដូចម្តេច ។ ភិក្ខុនោះទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមិនដឹងសោះឡើយ ។ ព្រះដ៏មានព្រះភាគត្រាស់ថា ម្នាលភិក្ខុ អាបត្តិមិនមានដល់ភិក្ខុអ្នកមិនដឹង ។ សម័យនោះឯង មានភិក្ខុ ១ រូប ដើរទៅកាន់ផ្លូវឆ្ងាយជាមួយនឹងពួកឈ្មួញរទេះ ។ បុរសម្នាក់ក៏លួងលោមភិក្ខុនោះដោយអាមិស លុះឃើញទីគយហើយ បានឲ្យកែវមណីមានតំលៃច្រើនដល់ភិក្ខុនោះដោយពាក្យថា បពិត្រលោកដ៏ចំរើន សូមលោកម្ចាស់យកកែវមណីនេះ ឲ្យរំលងទីគយទៅផង ។

។ បេ ។ កុមិនេ ពទ្ធេ មច្ឆេ ការុញ្ញេន មុញ្ចិ ។ បេ ។ កុមិនេ ពទ្ធេ មច្ឆេ បុរេ សាមិកា បស្សន្តីតិ ថេយ្យចិត្តោ មុញ្ចិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(១៤៣) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ យានេ ភណ្ឌំ បស្សិត្វា ឥតោ គណ្ហន្តោ បារាជិកោ ភវិស្សាមីតិ អក្កមិត្វា បវដ្ដេត្វា អគ្គហេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(១៤៤) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ កុលលេន ឧក្ខិត្តំ មំសបេសឹ សាមិកានំ ទស្សាមីតិ អគ្គហេសិ ។ សាមិកា តំ ភិក្ខុំ ចោទេសុំ អស្សមណោសិ ត្វន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អថេយ្យចិត្តស្សាតិ ។



។ បេ ។ ភិក្ខុដោះលែងត្រីជាប់ទ្រូយដែលជាប់លបដោយសេចក្ដីករុណា ។ បេ ។ ភិក្ខុឃើញត្រីជាប់ទ្រូយជាប់លបមានថេយ្យចិត្តថា ក្រែងពួកម្ចាស់គេឃើញមុន ហើយដោះលែងត្រីនោះទៅ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

(១៤៣) សម័យនោះឯង មានភិក្ខុ១រូប ឃើញទ្រព្យនៅក្នុងយាន ហើយគិតថា បើអញយកតាមទីនេះមុខជានឹងត្រូវអាបត្តិបារាជិក ទើបលួសប្រមៀលឲ្យធ្លាក់ចុះ ហើយក៏កាន់យកទៅ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(១៤៤) សម័យនោះឯង មានភិក្ខុ១រូប បានរើសយកដុំសាច់ដែលសត្វក្អែកពាំយកទៅ ដោយគិតថា អញនឹងប្រគល់ឲ្យពួកម្ចាស់សាច់ ។ ពួកម្ចាស់សាច់នាំគ្នាចោទប្រកាន់ភិក្ខុនោះថា លោកមិនមែនជាសមណៈទេ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អាបត្តិមិនមានដល់ភិក្ខុដែលមិនមានថេយ្យចិត្ត ។

តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ កុលលសេន ឧក្ខិត្តំ មំសបេសឹ បុរេ សាមិកា បស្សន្តីតិ ថេយ្យចិត្តោ អវហាសិ ។ សាមិកា តំ ភិក្ខុំ ចោទេសុំ អស្សមណោសិ ត្វន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។បេ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

[១៨៦] តេន ខោ បន សមយេន មនុស្សា ឧឡុម្បំ ពន្ធិត្វា អចិរវតិយា នទិយា ឱសារេន្តិ ។ ពន្ធនេ ឆិន្នេ កដ្ឋានិ វិប្បកិណ្ណានិ អគមំសុ ។ ភិក្ខូ បំសុកូលសញ្ញិនោ ឧត្តារេសុំ ។ សាមិកា តេ ភិក្ខូ ចោទេសុំ អស្សមណាត្ថ តុម្ហេតិ ។ តេសំ កុក្កុច្ចំ អហោសិ ។បេ។ អនាបត្តិ ភិក្ខវេ បំសុកូលសញ្ញិស្សាតិ ។ តេន ខោ បន សមយេន មនុស្សា ឧឡុម្បំ ពន្ធិត្វា អចិរវតិយា នទិយា ឱសារេន្តិ ។ ពន្ធនេ ឆិន្នេ កដ្ឋានិ វិប្បកិណ្ណានិ អគមំសុ ។ ភិក្ខូ បុរេ សាមិកា បស្សន្តីតិ ថេយ្យចិត្តា ឧត្តារេសុំ ។ សាមិកា តេ ភិក្ខូ ចោទេសុំ អស្សមណាត្ថ តុម្ហេតិ ។ តេសំ កុក្កុច្ចំ អហោសិ ។បេ។



សម័យនោះឯង មានភិក្ខុ ១ រូប ឃើញដុំសាច់ដែលសត្វខ្លែងពាំយកទៅ មានថេយ្យចិត្តគិតថា ក្រែងពួកម្ចាស់គេឃើញមុន ហើយក៏កាន់យកដុំសាច់នោះទៅ ។ ពួកម្ចាស់សាច់នាំគ្នាចោទប្រកាន់ភិក្ខុនោះថា លោកមិនមែនជាសមណៈទេ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

[១៨៦] សម័យនោះឯង មនុស្សទាំងឡាយចងក្បូន ហើយបណ្ដែតតាមស្ទឹងអចិរវតី ។ កាលចំណងក្បូនដាច់ ឈើទាំងឡាយក៏អណ្ដែតខ្ចាត់ខ្ចាយទៅ ។ ភិក្ខុទាំងឡាយសំគាល់ថា ជារបស់បង្សុកូលហើយនាំគ្នាស្រង់យកឡើង ។ ពួកម្ចាស់ក្បូននាំគ្នាចោទប្រកាន់ភិក្ខុទាំងឡាយនោះថា លោកទាំងឡាយ មិនមែនជាសមណៈទេ ។ ភិក្ខុទាំងឡាយនោះមានសេចក្ដីសង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អាបត្តិមិនមានដល់ភិក្ខុដែលសំគាល់ថាជារបស់បង្សុកូល ។ សម័យនោះឯង មនុស្សទាំងឡាយចងក្បូន ហើយបណ្ដែតតាមស្ទឹងអចិរវតី ។ កាលចំណងក្បូនដាច់ ឈើទាំងឡាយក៏អណ្ដែតខ្ចាត់ខ្ចាយទៅ ។ ភិក្ខុទាំងឡាយមានថេយ្យចិត្តគិតថា ក្រែងម្ចាស់ឈើគេឃើញមុន ហើយស្រង់យកឡើង ពួកម្ចាស់ឈើនាំគ្នាចោទប្រកាន់ភិក្ខុទាំងឡាយនោះថា លោកទាំងឡាយមិនមែនជាសមណៈទេ ។ ភិក្ខុទាំងឡាយនោះមានសេចក្ដីសង្ស័យ ។បេ។

អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(១៥៧) តេន ខោ បន សមយេន អញ្ញតរោ គោបាលកោ រុក្ខេ សាដកំ អាលគ្គេត្វា ឧច្ចារំ អគមាសិ ។ អញ្ញតរោ ភិក្ខុ បំសុកូលសញ្ញី អគ្គហេសិ ។ អថ ខោ សោ គោបាលកោ តំ ភិក្ខុំ ចោទេសិ អស្សមណោសិ ត្វន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បំសុកូលសញ្ញិស្សាតិ ។

(១៥៨) តេន ខោ បន សមយេន អញ្ញតរស្ស ភិក្ខុនោ នទឹ ឧត្តរន្តស្ស រជកានំ ហត្ថតោ មុត្តំ សាដកំ បាទេ លគ្គំ ហោតិ ។ សោ ភិក្ខុ សាមិកានំ ទស្សាមីតិ អគ្គហេសិ ។ សាមិកា តំ ភិក្ខុំ ចោទេសុំ អស្សមណោសិ ត្វន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អថេយ្យចិត្តស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរស្ស ភិក្ខុនោ នទឹ ឧត្តរន្តស្ស រជកានំ ហត្ថតោ មុត្តំ សាដកំ



ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ ចាំនឹងឲ្យឃ្លាយ អ្នកចាំនឹងឲ្យឃ្លាយត្រូវអាបត្តិបារាជិកហើយ ។

(១៥៧) សម័យនោះឯង មានបុរសគង្វាលគោម្នាក់ ពាក់សម្ពត់សាដកនឹងដើមឈើ ហើយក៏ដើរទៅបន្ទោរបង់ឧច្ចារៈ ។ ភិក្ខុ១រូប សំគាល់ថាជារបស់បំសុកូលហើយក៏កាន់យកទៅ ។ គ្រានោះ បុរសគង្វាលគោនោះចោទប្រកាន់ភិក្ខុនោះថា លោកមិនមែនជាសមណៈទេ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អាបត្តិមិនមានដល់ភិក្ខុដែលសំគាល់ថាជារបស់បំសុកូល ។

(១៥៨) សម័យនោះឯង កាលភិក្ខុ១រូបកំពុងឆ្លងស្ទឹង សម្ពត់សាដកក៏របូតអំពីដៃជាងដែលគក់ចាំនឹងឲ្យឃ្លាយ ហើយទៅជាប់នឹងជើងភិក្ខុ ។ ភិក្ខុនោះបានកាន់យកសម្ពត់សាដកនោះដោយគិតថា អាត្មានឹងឲ្យដល់ម្ចាស់ចាំនឹងឲ្យឃ្លាយ ។ ពួកម្ចាស់សម្ពត់សាដកក៏នាំគ្នាចោទប្រកាន់ភិក្ខុនោះថា លោកមិនមែនជាសមណៈទេ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អាបត្តិមិនមានដល់ភិក្ខុដែលមិនមានថេយ្យចិត្ត ។ សម័យនោះឯង កាលភិក្ខុ១រូប កំពុងឆ្លងស្ទឹង សម្ពត់សាដករបូតអំពីដៃនៃជាងដែលគក់ចាំនឹងឲ្យឃ្លាយ ហើយសាត់ទៅ

បាទេ លគ្គំ ហោតិ ។ សោ ភិក្ខុ មា សាមិកា បស្សន្តូតិ ថេយ្យចិត្តោ អគ្គហេសិ ។ សាមិកា តំ ភិក្ខុំ ចោទេសុំ អស្សមណោសិ ត្វន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តិំ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(១៥៩) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សប្បិកុម្ភឹ បស្សិត្វា ថោកំ ថោកំ បរិភុញ្ជិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។

(១៦០) តេន ខោ បន សមយេន សម្ពហុលា ភិក្ខូ សំវិទហិត្វា អគមំសុ ភណ្ឌំ អវហរិស្សាមាតិ ។ ឯកោ ភណ្ឌំ អវហរិ ។ តេ ឯវមាហំសុ ន មយំ បារាជិកា យោ អវហដោ សោ បារាជិកោតិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អាបត្តិំ តុម្ហេ ភិក្ខវេ អាបន្នា បារាជិកន្តិ ។ តេន ខោ បន សមយេន សម្ពហុលា ភិក្ខូ សំវិទហិត្វា ភណ្ឌំ អវហរិត្វា ភាជេសុំ ។ តេហិ ភាជិយមានេ



ជាប់នឹងជើងភិក្ខុ ។ ភិក្ខុនោះមានថេយ្យចិត្តគិតថា ក្រែងពួកម្ចាស់សម្ពត់សាដកឃើញមុខ ហើយក៏កាន់យកទៅ ។ ម្ចាស់សម្ពត់សាដកទាំងឡាយ ចាំគ្នាចោទប្រកាន់ភិក្ខុនោះថា លោកមិនមែនជាសមណៈទេ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

[១៥៩] សម័យនោះឯង ភិក្ខុ១រូបបានឃើញឆ្នាំងដាក់សប្បិ ហើយបានឆាន់បន្តិចៗម្ដង ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិទុក្កដ ។

[១៦០] កាលណោះ ភិក្ខុទាំងឡាយច្រើនរូបបាននិយាយបបួលគ្នាថា យើងទាំងឡាយនឹងទៅលួចទ្រព្យ ហើយនាំគ្នាទៅ ។ ភិក្ខុ១រូបលួចទ្រព្យបានមក ។ ភិក្ខុទាំងឡាយនោះបាននិយាយគ្នាយ៉ាងនេះថា ពួកយើងមិនត្រូវអាបត្តិបារាជិកទេ លោកណាលួចបានមក លោកនោះត្រូវអាបត្តិបារាជិក ។ ភិក្ខុទាំងឡាយនាំគ្នាក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយត្រូវអាបត្តិបារាជិកហើយ ។ កាលណោះ ភិក្ខុទាំងឡាយច្រើនរូបបបួលគ្នាលួចទ្រព្យបានមកហើយក៏ចែកគ្នា ។ កាលដែលភិក្ខុអម្បាលនោះកំពុងចែកគ្នា

អស្សមណាត្ថ តុម្ហេតិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បំសុកូលសញ្ញិស្សាតិ ។ តេន ខោ បន សមយេន សាវត្ថិយំ អន្ធវនេ ចោរា សូករំ ហន្ត្វា មំសំ ខាទិត្វា សេសកំ បដិសាមេត្វា អគមំសុ ។ ភិក្ខូ បំសុកូលសញ្ញិនោ បដិគ្គហាបេត្វា បរិភុញ្ជិំសុ ។ ចោរា តេ ភិក្ខូ ចោទេសុំ អស្សមណាត្ថ តុម្ហេតិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បំសុកូលសញ្ញិស្សាតិ ។

[១៦៣] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ តិណក្ខេត្តំ គន្ត្វា លូតំ តិណំ បញ្ចមាសគ្ឃនកំ ថេយ្យចិត្តោ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(១៦៤) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ តិណក្ខេត្តំ គន្ត្វា តិណំ លាយិត្វា បញ្ចមាសគ្ឃនកំ ថេយ្យចិត្តោ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។



ថា លោកទាំងឡាយមិនមែនជាសមណៈទេ ។ ភិក្ខុអម្បាលនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អាបត្តិមិនមានដល់ភិក្ខុដែលសំគាល់ថាជារបស់បំសុកូល ។ សម័យនោះ ពួកចោរសម្លាប់ជ្រូកស៊ីសាច់ ហើយទុកដាក់សាច់ដ៏សេសសល់ ក្នុងព្រៃអន្ធវន ទៀបក្រុងសាវត្ថី ហើយនាំគ្នាទៅ ។ ភិក្ខុទាំងឡាយសំគាល់ថាជារបស់បំសុកូល ហើយនាំគ្នាកាន់យកសាច់នោះមកឆាន់ ។ ពួកចោរនាំគ្នាចោទប្រកាន់ភិក្ខុអម្បាលនោះថា លោកទាំងឡាយមិនមែនជាសមណៈទេ ។ ភិក្ខុអម្បាលនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អាបត្តិមិនមានដល់ភិក្ខុដែលសំគាល់ថាជារបស់បំសុកូល ។

[១៦៣] គ្រានោះ ភិក្ខុ១រូប ទៅកាន់ស្រែស្មៅ (ចម្ការស្មៅ) មានថេយ្យចិត្ត ហើយលួចយកស្មៅដែលគេច្រូតទុក មានដំឡៃ ៥ មាសក ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

(១៦៤) សម័យនោះ ភិក្ខុ១រូប ទៅកាន់ស្រែស្មៅ មានថេយ្យចិត្ត ហើយលួចច្រូតយកស្មៅគេមានដំឡៃ ៥ មាសក ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

[១៦៥] តេន ខោ បន សមយេន អាគន្តុកា ភិក្ខូ សង្ឃស្ស អម្ពំ ភាជាបេត្វា បរិភុញ្ជឹសុ ។ អាវាសិកា ភិក្ខូ តេ ភិក្ខូ ចោទេសុំ អស្សមណាត្ថ តុម្ហេតិ ។ តេសំ កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ កិំចិត្តា តុម្ហេ ភិក្ខវេតិ ។ បរិភោគត្ថាយ មយំ ភគវាតិ ។ អនាបត្តិ ភិក្ខវេ បរិភោគត្ថាយាតិ ។ តេន ខោ បន សមយេន អាគន្តុកា ភិក្ខូ សង្ឃស្ស ជម្ពុំ ។ បេ ។ សង្ឃស្ស លពុជំ ។ បេ ។ សង្ឃស្ស បនសំ ។ បេ ។ សង្ឃស្ស តាលបក្កំ ។ បេ ។ សង្ឃស្ស ឧច្ឆុំ ។ បេ ។ សង្ឃស្ស តិម្ពរូសកំ ភាជាបេត្វា បរិភុញ្ជឹសុ ។ អាវាសិកា ភិក្ខូ តេ ភិក្ខូ ចោទេសុំ អស្សមណាត្ថ តុម្ហេតិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បរិភោគត្ថាយាតិ ។



(១៦៥) សម័យនោះ ភិក្ខុទាំងឡាយជាអាគន្តុក (ភិក្ខុអ្នកមកថ្មី) ញុំាងភិក្ខុឲ្យចែកផ្លែស្វាយរបស់សង្ឃ ហើយបរិភោគទៅ ។ ភិក្ខុម្ចាស់អាវាសទាំងឡាយចោទប្រកាន់ភិក្ខុជាអាគន្តុកអម្បាលនោះថា លោកទាំងឡាយមិនមែនជាសមណៈទេ ។ ភិក្ខុអាគន្តុកអម្បាលនោះមានសេចក្ដីសង្ស័យ ។ ទើបនាំគ្នាក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់សួរថា ម្នាលភិក្ខុទាំងឡាយ អ្នកគិតដូចម្ដេច ។ ភិក្ខុអម្បាលនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គទាំងឡាយមានចិត្តប្រាថ្នាដើម្បីនឹងបរិភោគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អាបត្តិមិនមានដល់ភិក្ខុដែលប្រាថ្នាដើម្បីនឹងបរិភោគទេ ។ សម័យនោះ ភិក្ខុទាំងឡាយជាអាគន្តុកញុំាងភិក្ខុឲ្យចែកផ្លែព្រីងរបស់សង្ឃ ។ បេ ។ ផ្លែខ្នុរសំឡរបស់សង្ឃ ។ បេ ។ ផ្លែខ្នុរណាំងរបស់សង្ឃ ។ បេ ។ ផ្លែត្នោតទុំរបស់សង្ឃ ។ បេ ។ អំពៅរបស់សង្ឃ ។ បេ ។ ផ្លែទន្លាប់របស់សង្ឃ ហើយនាំគ្នាបរិភោគទៅ ។ ពួកភិក្ខុដែលជាម្ចាស់អាវាសនាំគ្នាចោទប្រកាន់ភិក្ខុអាគន្តុកអម្បាលនោះថា លោកទាំងឡាយមិនមែនជាសមណៈទេ ។ ភិក្ខុអាគន្តុកអម្បាលនោះ មានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អាបត្តិមិនមានដល់ភិក្ខុដែលប្រាថ្នាដើម្បីនឹងបរិភោគទេ ។

(១៦៦) តេន ខោ បន សមយេន អម្ពបាលកា ភិក្ខូនំ អម្ពផលំ ទេន្តិ ។ ភិក្ខូ គោបេតុំ ឥមេ ឥស្សរា នយិមេ ទាតុន្តិ កុក្កុច្ចាយន្តា ន បដិគ្គណ្ហន្តិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អនាបត្តិ ភិក្ខវេ គោបកស្ស ទានេតិ ។ តេន ខោ បន សមយេន ជម្ពុបាលកា ។ បេ ។ លពុជបាលកា ។ បេ ។ បនសបាលកា ។ បេ ។ តាលបក្កបាលកា ។ បេ ។ ឧច្ឆុបាលកា ។ បេ ។ តិម្ពរូសកបាលកា ភិក្ខូនំ តិម្ពរូសកេ ទេន្តិ ។ ភិក្ខូ គោបេតុំ ឥមេ ឥស្សរា នយិមេ ទាតុន្តិ កុក្កុច្ចាយន្តា ន បដិគ្គណ្ហន្តិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អនាបត្តិ ភិក្ខវេ គោបកស្ស ទានេតិ ។

(១៦៧) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សង្ឃស្ស ទារុំ តាវកាលិកំ ហរិត្វា អត្តនោ វិហារស្ស កុដ្ដំ ឧដ្ឋាបេសិ ។ ភិក្ខូ តំ ភិក្ខុំ ឯតទវោចុំ



(១៦៦) សម័យនោះ ពួកមនុស្សអ្នករក្សាស្វាយនាំគ្នាប្រគេនផ្លែស្វាយដល់ភិក្ខុទាំងឡាយ ។ ភិក្ខុទាំងឡាយសង្ស័យមិនហ៊ានទទួល ដោយគិតថា មនុស្សអ្នករក្សានេះ ជាឥស្សរៈត្រឹមតែរក្សាប៉ុណ្ណោះ មនុស្សអ្នករក្សានេះមិនជាឥស្សរៈដើម្បីនឹងឲ្យបានទេ ។ ទើបនាំគ្នាក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុទាំងឡាយ បើកាលដែលបុគ្គលអ្នករក្សាគេឲ្យហើយ (ភិក្ខុអ្នកទទួល) មិនត្រូវអាបត្តិឡើយ ។ សម័យនោះឯង មនុស្សអ្នករក្សាព្រីងទាំងឡាយ ។ បេ ។ អ្នករក្សាខ្នុរសំប៉ែតទាំងឡាយ ។ បេ ។ អ្នករក្សាខ្នុរណាំងទាំងឡាយ ។ បេ ។ អ្នករក្សាផ្លែត្នោតទុំទាំងឡាយ ។ បេ ។ អ្នករក្សាអំពៅទាំងឡាយ ។ បេ ។ អ្នករក្សាផ្លែទន្លាប់ទាំងឡាយ បានប្រគេនផ្លែទន្លាប់ទាំងឡាយ ដល់ភិក្ខុទាំងឡាយ ។ ភិក្ខុទាំងឡាយសង្ស័យមិនហ៊ានទទួល ដោយគិតថា មនុស្សអ្នករក្សានេះជាឥស្សរៈត្រឹមតែរក្សាប៉ុណ្ណោះ មនុស្សអ្នករក្សានេះមិនជាឥស្សរៈដើម្បីនឹងឲ្យទេ ។ ទើបនាំគ្នាក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អាបត្តិមិនមានដល់ភិក្ខុ ព្រោះទានដែលអ្នករក្សាឲ្យនោះទេ ។

(១៦៧) សម័យនោះ ភិក្ខុ១រូបខ្ចីឈើរបស់សង្ឃយកទៅឧបត្ថម្ភ (ជួសជុល)ជញ្ជាំងវិហាររបស់ខ្លួន ។ ភិក្ខុទាំងឡាយនាំគ្នាពោលប្រាប់ភិក្ខុ

អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ សង្ឃស្ស មញ្ចំ ។ បេ ។ សង្ឃស្ស ភិសឹ ។ បេ ។ សង្ឃស្ស ពិម្ពោហនំ ។ បេ ។ សង្ឃស្ស កវាដំ ។ បេ ។ សង្ឃស្ស អាលោកសន្ធឹ ។ បេ ។ សង្ឃស្ស គោបានសឹ ថេយ្យ-ចិត្តោ អវហរិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

[១៧០] តេន ខោ បន សមយេន ភិក្ខូ អញ្ញត-រស្ស ឧបាសកស្ស វិហារបរិភោគំ សេនាសនំ អញ្ញត្រ បរិភុញ្ជន្តិ ។ អថខោ សោ ឧបាសកោ ឧជ្ឈាយតិ ខីយតិ វិបាចេតិ កថំ ហិ នាម ភទន្តា អញ្ញត្រ បរិភោគំ អញ្ញត្រ បរិភុញ្ជិស្សន្តីតិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ ន ភិក្ខវេ អញ្ញត្រ បរិភោគោ អញ្ញត្រ បរិភុញ្ជិតព្វោ យោ បរិភុញ្ជេយ្យ អាបត្តិ ទុក្កដស្សាតិ ។ តេន ខោ បន សមយេន ភិក្ខូ ឧបោសថគ្គម្បិ[១] សន្និសជ្ជម្បិ ហរិត្វា កុក្កុច្ចាយន្តា ឆមាយំ និសី-ទន្តិ ។ គត្តានិបិ ចីវរានិបិ បំសុកិតានិ ហោន្តិ ។

១ ក. ឧបោសថគ្គំ ។



ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង ភិក្ខុ ១ រូប មានថេយ្យចិត្តហើយលួចយកគ្រែរបស់សង្ឃ ។ បេ ។ ពូករបស់សង្ឃ ។ បេ ។ ខ្នើយរបស់សង្ឃ ។ បេ ។ សន្លឹកទ្វាររបស់សង្ឃ ។ បេ ។ សន្លះបង្អួចរបស់សង្ឃ ។ បេ ។ ឈើបង្កង់របស់សង្ឃ ។ សេចក្តីសង្ស័យមានដល់ភិក្ខុនោះ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកត្រូវអាបត្តិបារាជិកហើយ ។

[១៧០] សម័យនោះ ភិក្ខុទាំងឡាយយកសេនាសនៈរបស់ឧបាសកម្នាក់ ដែលគេទុកជារបស់សម្រាប់ប្រើប្រាស់ក្នុងវិហារ ទៅប្រើប្រាស់ក្នុងទីដទៃ ។ គ្រានោះ ឧបាសកនោះពោលទោស តិះដៀល បន្តុះបង្អាប់ថា លោកដ៏ចំរើនទាំងឡាយមិនសមនឹងយករបស់គេសំរាប់ទុកប្រើ-ប្រាស់ក្នុងទីដទៃ ទៅប្រើប្រាស់ក្នុងទីដទៃវិញ ។ ភិក្ខុទាំងឡាយក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ គ្រឿងប្រើប្រាស់របស់គេក្នុងទីដទៃ ភិក្ខុមិនគប្បីយកទៅប្រើប្រាស់ក្នុងទីដទៃទេ តែភិក្ខុណាយកទៅប្រើប្រាស់ ភិក្ខុនោះត្រូវអាបត្តិទុក្កដ ។ សម័យនោះ ភិក្ខុទាំងឡាយប្រឹងនាំយកអាសនៈសំរាប់អង្គុយក្នុងរោងឧបោសថ តែមានសេចក្តីសង្ស័យមិនបាននាំយកទៅ ហើយក៏អង្គុយលើផែនដី ។ ខ្លួនក្តី ចីវរក្តី ក៏ប្រឡាក់ទៅដោយធូលី ។

## បារាជិកកណ្ឌេ តតិយសិក្ខាបទំ

[១៧៦] តេន សមយេន ពុទ្ធោ ភគវា វេសាលិយំ វិហរតិ មហាវនេ កូដាគារសាលាយំ ។ តេន ខោ បន សមយេន ភគវា ភិក្ខូនំ អនេកបរិយាយេន អសុភកថំ កថេតិ អសុភាយ វណ្ណំ ភាសតិ អសុភភាវនាយ វណ្ណំ ភាសតិ អាទិស្ស អាទិស្ស អសុភសមាបត្តិយា វណ្ណំ ភាសតិ ។ អថខោ ភគវា ភិក្ខូ អាមន្តេសិ ឥច្ឆាមហំ ភិក្ខវេ អឌ្ឍមាសំ បដិសល្លីយិតុំ នម្ហិ កោចិ ឧបសង្កមិតព្វោ អញ្ញត្រ ឯកេន បិណ្ឌបាតនីហារកេនាតិ ។ ឯវំ ភន្តេតិ ខោ តេ ភិក្ខូ ភគវតោ បដិស្សុណិត្វា

## បារាជិកកណ្ឌ សិក្ខាបទទី ៣

(១៧៦) សម័យនោះ ព្រះសម្ពុទ្ធដ៏មានព្រះភាគទ្រង់គង់នៅក្នុងកូដាគារសាលា[១] ក្នុងព្រៃមហាវ័ន[២] ទៀបក្រុងវេសាលី[៣] ។ គ្រានោះ ព្រះដ៏មានព្រះភាគទ្រង់សំដែងនូវអសុភកថា ទ្រង់សំដែងរៀបរាប់ពីអសុភ ទ្រង់សំដែងនូវគុណនៃការចំរើនអសុភកម្មដ្ឋាន ទ្រង់សំដែងនូវគុណនៃអសុភសមាបត្តិក្នុងអសុភកម្មដ្ឋានជាញឹកញយ ដោយបរិយាយដ៏ច្រើន ។ លំដាប់នោះឯង ព្រះដ៏មានព្រះភាគទ្រង់ត្រាស់នឹងភិក្ខុទាំងឡាយដោយព្រះពុទ្ធដីកាថា ម្នាលភិក្ខុទាំងឡាយ តថាគតចង់នឹងចេញពួនសម្ងំនៅអស់កាលកន្លះខែ (ក្នុងកម្មដ្ឋាន) កុំឲ្យអ្នកណាមួយចូលទៅរកតថាគតឡើយ វៀរលែងតែភិក្ខុមួយរូបជាអ្នកនាំបិណ្ឌបាតទៅឲ្យតថាគត ។ ចំណែកភិក្ខុទាំងនោះ ទទួលព្រះពុទ្ធដីកា របស់ព្រះដ៏មានព្រះភាគថា ឯវំ ភន្តេ (យ៉ាងហ្នឹងព្រះអង្គ) ហើយក៏ពីកាលនោះមក

---

១ សាលា គឺផ្ទះមានកំពូល ។ តាមអដ្ឋកថាថា ក្នុងព្រៃមហាវ័ននោះ គេសាងវិហារ សង់សាលាធ្វើកូដាគារឲ្យសម្រាប់ជាទីប្រថាប់នៃព្រះបរមសាស្តា ។ ២ គឺព្រៃធំដុះឯងៗ ឥតមានបុគ្គលណាដាំ ដុះជាប់ញាត់ឥតមានចន្លោះ ជាប់នឹងព្រៃហេមពាន្តទៅទល់នឹងមហាសមុទ្រ (តំរង់ទិស) ។ ៣ ឈ្មោះក្រុងរបស់ស្តេចលិច្ឆវី ក៏ដើមឡើងដោយក្រុងនោះធំទូលាយ ម្យ៉ាងទៀតក៏ដោយមានកំពែងព័ទ្ធជុំវិញដល់ ៣ ជាន់ ។ (សេចក្តីនេះមានចំលាយពិស្តារក្នុងគម្ពីរបរមត្ថជោតិកា អដ្ឋកថាខុទ្ទកនិកាយ) ។

សោ សតោវ អស្សសតិ សតោ បស្សសតិ ទីឃំ វា អស្សសន្តោ ទីឃំ អស្សសាមីតិ បជានាតិ ទីឃំ វា បស្សសន្តោ ទីឃំ បស្សសាមីតិ បជានាតិ រស្សំ វា អស្សសន្តោ រស្សំ អស្សសាមីតិ បជានាតិ រស្សំ វា បស្សសន្តោ រស្សំ បស្សសាមីតិ បជានាតិ សព្វកាយប្បដិសំវេទី អស្សសិស្សាមីតិ សិក្ខតិ សព្វកាយប្បដិសំវេទី បស្សសិស្សាមីតិ សិក្ខតិ បស្សម្ភយំ កាយសង្ខារំ អស្សសិស្សាមីតិ សិក្ខតិ បស្សម្ភយំ កាយសង្ខារំ បស្សសិស្សាមីតិ សិក្ខតិ បីតិប្បដិសំវេទី អស្សសិស្សាមីតិ សិក្ខតិ បីតិប្បដិសំវេទី បស្សសិស្សាមីតិ សិក្ខតិ សុខប្បដិសំវេទី អស្សសិស្សាមីតិ សិក្ខតិ សុខប្បដិសំវេទី បស្សសិស្សាមីតិ សិក្ខតិ ចិត្តសង្ខារប្បដិសំវេទី អស្សសិស្សាមីតិ សិក្ខតិ ចិត្តសង្ខារប្បដិសំវេទី បស្សសិស្សាមីតិ



ភិក្ខុនោះមានសតិ ដកដង្ហើមចេញ មានសតិដកដង្ហើមចូល កាលដកដង្ហើមចេញវែងក៏ដឹងច្បាស់ថា អញដកដង្ហើមចេញវែង ឬកាលដកដង្ហើមចូលវែងក៏ដឹងច្បាស់ថា អញដកដង្ហើមចូលវែង កាលដកដង្ហើមចេញខ្លី ក៏ដឹងច្បាស់ថា អញដកដង្ហើមចេញខ្លី ឬកាលដកដង្ហើមចូលខ្លី ក៏ដឹងច្បាស់ថា អញដកដង្ហើមចូលខ្លី (ភិក្ខុ) សិក្សាថា អញនឹងកំណត់ដឹងច្បាស់នូវកងខ្យល់ទាំងពួង ហើយដកដង្ហើមចេញ សិក្សាថា អញនឹងកំណត់ដឹងច្បាស់នូវកងខ្យល់ទាំងពួង ហើយដកដង្ហើមចូល សិក្សាថា អញរម្ងាប់កាយសង្ខារ (គឺខ្យល់អស្សាសបស្សាស) ហើយដកដង្ហើមចេញ សិក្សាថា អញនឹងរម្ងាប់កាយសង្ខារ ហើយដកដង្ហើមចូល សិក្សាថា អញនឹងកំណត់ដឹងច្បាស់នូវបីតិ (គឺសេចក្តីឆ្អែតកាយឆ្អែតចិត្ត) ហើយដកដង្ហើមចេញ សិក្សាថា អញនឹងកំណត់ដឹងច្បាស់នូវបីតិ ហើយដកដង្ហើមចូល សិក្សាថា អញនឹងកំណត់ដឹងច្បាស់នូវសុខ (គឺសុខកាយសុខចិត្ត) ហើយដកដង្ហើមចេញ សិក្សាថា អញនឹងកំណត់ដឹងច្បាស់នូវសុខ ហើយដកដង្ហើមចូល សិក្សាថា អញនឹងកំណត់ដឹងច្បាស់នូវចិត្តសង្ខារ (គឺវេទនានឹងសញ្ញា) ហើយដកដង្ហើមចេញ សិក្សាថា អញនឹងកំណត់ដឹងច្បាស់នូវចិត្តសង្ខារ ហើយដកដង្ហើមចូល សិក្សាថា

សិក្ខតិ បស្សម្ភយំ ចិត្តសង្ខារំ អស្សសិស្សាមីតិ
សិក្ខតិ បស្សម្ភយំ ចិត្តសង្ខារំ បស្សសិស្សាមីតិ
សិក្ខតិ ចិត្តប្បដិសំវេទី អស្សសិស្សាមីតិ សិក្ខតិ
ចិត្តប្បដិសំវេទិ បស្សសិស្សាមីតិ សិក្ខតិ អភិប្បមោ-
ទយំ ចិត្តំ អស្សសិស្សាមីតិ សិក្ខតិ អភិប្បមោទយំ
ចិត្តំ បស្សសិស្សាមីតិ សិក្ខតិ សមាទហំ ចិត្តំ
អស្សសិស្សាមីតិ សិក្ខតិ សមាទហំ ចិត្តំ បស្ស-
សិស្សាមីតិ សិក្ខតិ វិមោចយំ ចិត្តំ អស្សសិស្សាមីតិ
សិក្ខតិ វិមោចយំ ចិត្តំ បស្សសិស្សាមីតិ សិក្ខតិ
អនិច្ចានុបស្សី អស្សសិស្សាមីតិ សិក្ខតិ អនិច្ចានុ-
បស្សី បស្សសិស្សាមីតិ សិក្ខតិ វិរាគានុបស្សី
អស្សសិស្សាមីតិ សិក្ខតិ វិរាគានុបស្សី បស្ស-
សិស្សាមីតិ សិក្ខតិ និរោធានុបស្សី អស្សសិស្សា-
មីតិ សិក្ខតិ និរោធានុបស្សី បស្សសិស្សាមីតិ
សិក្ខតិ បដិនិស្សគ្គានុបស្សី អស្សសិស្សាមីតិ សិក្ខតិ



អញនឹងរំងាប់ចិត្តសង្ខារ សឹមដកដង្ហើមចេញ សិក្សាថា អញនឹង
រំងាប់ចិត្តសង្ខារ សឹមដកដង្ហើមចូល សិក្សាថា អញនឹងកំណត់ដឹង
ច្បាស់នូវចិត្ត សឹមដកដង្ហើមចេញ សិក្សាថា អញនឹងកំណត់ដឹងច្បាស់
នូវចិត្ត សឹមដកដង្ហើមចូល សិក្សាថា អញនឹងធ្វើចិត្តឲ្យរីករាយ សឹមដក
ដង្ហើមចេញ សិក្សាថា អញនឹងធ្វើចិត្តឲ្យរីករាយ សឹមដកដង្ហើមចូល
សិក្សាថា អញនឹងតាំងចិត្តទុក សឹមដកដង្ហើមចេញ សិក្សាថា អញ
នឹងតាំងចិត្តទុក សឹមដកដង្ហើមចូល សិក្សាថា អញនឹងដោះចិត្តឲ្យផុត
ស្រឡះ សឹមដកដង្ហើមចេញ សិក្សាថា អញនឹងដោះចិត្តឲ្យផុតស្រឡះ
សឹមដកដង្ហើមចូល សិក្សាថា អញនឹងពិចារណាដោយសភាពជារបស់
មិនទៀង សឹមដកដង្ហើមចេញ សិក្សាថា អញនឹងពិចារណាដោយសភាព
ជារបស់មិនទៀង សឹមដកដង្ហើមចូល សិក្សាថា អញនឹងពិចារណាដោយ
សភាពឥតរាគៈ សឹមដកដង្ហើមចេញ សិក្សាថា អញនឹងពិចារណាដោយ
សភាពឥតរាគៈ សឹមដកដង្ហើមចូល សិក្សាថា អញនឹងពិចារណាដោយ
សភាពរលត់ទៅ សឹមដកដង្ហើមចេញ សិក្សាថា អញនឹងពិចារណា
ដោយសភាពរលត់ទៅ សឹមដកដង្ហើមចូល សិក្សាថា អញនឹងពិចារ-
ណាឃើញ ១ ដោយកិរិយាលះបង់នូវសេចក្ដីប្រកាន់ សឹមដកដង្ហើមចេញ

ឆព្វគ្គិយា ភិក្ខូ តស្សា ឥត្ថិយា បដិពទ្ធចិត្តា ហោន្តិ ។ អថខោ ឆព្វគ្គិយានំ ភិក្ខូនំ ឯតទហោសិ សចេ ខោ សោ អាវុសោ ឧបាសកោ ជីវិស្សតិ ន មយំ តំ ឥត្ថឹ លភិស្សាម ហន្ទ មយំ អាវុសោ តស្ស ឧបាសកស្ស មរណវណ្ណំ សំវណ្ណេមាតិ ។ អថខោ ឆព្វគ្គិយា ភិក្ខូ យេន សោ ឧបាសកោ តេនុបសង្កមឹសុ ឧបសង្កមិត្វា តំ ឧបាសកំ ឯតទវោចុំ ត្វំ ខោសិ ឧបាសក កតកល្យាណោ កតកុសលោ កតភីរុត្តាណោ អកតបាបោ អកតលុទ្ទោ អកតកិព្ពិសោ កតំ តយា កល្យាណំ អកតំ តយា បាបំ កឹ តុយ្ហិមិនា បាបកេន ទុជ្ជីវិតេន មតន្តេ ជីវិតា សេយ្យោ ឥតោ ត្វំ កាលង្កតោ កាយស្ស ភេទា បរំ មរណា សុគតឹ សគ្គំ លោកំ ឧបបជ្ជិស្សសិ តត្ថ ទិព្វេហិ បញ្ចហិ កាមគុណេហិ សមប្បិតោ សមង្គីភូតោ បរិចារេស្សសីតិ ។ អថខោ



សេចក្តីជ្រះថ្លា ។ ពួកឆព្វគ្គិយភិក្ខុមានចិត្តប្រតិពទ្ធចំពោះស្រ្តីនោះ ។ គ្រានោះ សេចក្តីត្រិះរិះនេះបានមានដល់ពួកឆព្វគ្គិយភិក្ខុថា ម្នាលអាវុសោទាំងឡាយ បើឧបាសកនោះនឹងរស់នៅ ពួកយើងមុខជានឹងមិនបានស្រ្តីនោះទេ ម្នាលអាវុសោទាំងឡាយ បើដូច្នោះយើង (នាំគ្នា) ពណ៌នាគុណនៃសេចក្តីស្លាប់ដល់ឧបាសកនោះ ។ គ្រានោះឯង ពួកឆព្វគ្គិយភិក្ខុនាំគ្នាចូលទៅកាន់ទីដែលឧបាសកនោះនៅ លុះចូលទៅដល់ហើយក៏និយាយពាក្យនេះនឹងឧបាសកនោះថា ម្នាលឧបាសក អ្នកឯងបានធ្វើអំពើល្អមកហើយ បានធ្វើកុសលមកហើយ បានធ្វើកម្មជាគ្រឿងការពារភ័យរួចស្រេចហើយ អ្នកឯងមិនដែលធ្វើបាប មិនដែលធ្វើអំពើលាមក មិនដែលធ្វើការអាក្រក់ អំពើល្អអ្នកបានធ្វើហើយ បាបអ្នកមិនបានធ្វើឡើយ អ្នកឯងមានប្រយោជន៍អ្វីដោយជីវិតក្រក់លាមកនេះ អ្នកស្លាប់ទៅប្រសើរជាងរស់នៅ អ្នកធ្វើកាលកិរិយាអំពីលោកនេះ លុះស្លាប់ចាកមនុស្សលោកនេះទៅកាន់បរលោក នឹងកើតក្នុងសុគតិ ឬស្ថានសួគ៌ អ្នកនឹងបានឆ្អែតស្កប់ស្កល់ (នឹងបានឲ្យស្រីអប្សរទាំងឡាយ) បម្រើ ដោយកាមគុណទាំង ៥ ដ៏ជាទិព្វក្នុងឋានសួគ៌នោះ ។ គ្រានោះឯង

អសប្បាយានិ ច សាយនីយានិ សាយិតោ អសប្បា-
យានិ ច បានានិ បីតោ តស្ស អាពាធោ
ឧប្បជ្ជិ ។ សោ តេនេវ អាពាធេន កាលម-
កាសិ ។ តស្ស បជាបតិ ឧជ្ឈាយតិ ខីយតិ
វិបាចេតិ អលជ្ជិនោ ឥមេ សមណា សក្យបុត្តិយា
ទុស្សីលា មុសាវាទិនោ ឥមេ ហិ នាម ធម្មចារិនោ
សមចារិនោ ព្រហ្មចារិនោ សច្ចវាទិនោ សីលវន្តោ
កល្យាណធម្មា បដិជានិស្សន្តិ នត្ថិ ឥមេសំ
សាមញ្ញំ នត្ថិ ឥមេសំ ព្រហ្មញ្ញំ នដ្ឋំ ឥមេសំ
សាមញ្ញំ នដ្ឋំ ឥមេសំ ព្រហ្មញ្ញំ កុតោ ឥមេសំ
សាមញ្ញំ កុតោ ឥមេសំ ព្រហ្មញ្ញំ អបគតា ឥមេ សា-
មញ្ញា អបគតា ឥមេ ព្រហ្មញ្ញា ឥមេ មេ សាមិកស្ស
មរណវណ្ណំ សំវណ្ណេសុំ ឥមេហិ មេ សាមិកោ មារិ-
តោ ។ អញ្ញេបិ មនុស្សា ឧជ្ឈាយន្តិ ខីយន្តិ វិបាចេន្តិ



កាលបញ្ចប់បញ្ចក់នូវសម្រាប់បញ្ចប់បញ្ចក់មិនសប្បាយផង ផឹកទឹកផ្លែ
មិនសប្បាយផង អាពាធក៏កើតឡើង ។ ឧបាសកនោះក៏ធ្វើកាល
កិរិយាស្លាប់ដោយអាពាធនោះឯង ។ ភរិយារបស់ឧបាសកនោះ
ពោលទោស តិះដៀល បន្តុះបង្អាប់ថា ពួកសមណៈទាំងនេះជាសក្យបុត្រ
ជាបុគ្គលឥតខ្មាស ជាមនុស្សទ្រុស្តសីល មានប្រក្រតីពោលពាក្យមុសា
ពួកសមណៈទាំងនេះនឹងប្តេជ្ញាខ្លួនថាជាអ្នកប្រព្រឹត្តធម៌ ជាអ្នកប្រព្រឹត្តរៀប
រយ ជាអ្នកប្រព្រឹត្តព្រហ្មចរិយធម៌ ជាអ្នកពោលពាក្យសត្យ ជាអ្នកមាន
សីល ជាអ្នកមានកល្យាណធម៌ ដូចម្តេចបាន ភាពសមណៈរបស់ពួកទាំង
នេះគ្មានទេ ព្រហ្មចរិយធម៌របស់ពួកទាំងនេះក៏គ្មានទេ សាមញ្ញគុណរបស់
សមណៈទាំងនេះវិនាសអស់ហើយ ព្រហ្មញ្ញគុណរបស់សមណៈទាំងនេះ
វិនាសអស់ហើយ សាមញ្ញគុណរបស់សមណៈទាំងនេះនឹងមានមកពីណា
ព្រហ្មញ្ញគុណរបស់សមណៈទាំងនេះនឹងមានមកពីណា សមណៈទាំងនេះ
ប្រាសចាកសាមញ្ញគុណហើយ សមណៈទាំងនេះប្រាសចាកព្រហ្មញ្ញ-
គុណហើយ (ព្រោះ) សមណៈទាំងនេះបានពណ៌នាគុណនៃសេចក្តីស្លាប់
ដល់ស្វាមីរបស់អញ ស្វាមីរបស់អញ គឺសមណៈទាំងនេះសម្លាប់ហើយ ។
ទាំងពួកមនុស្សឯទៀតក៏ពោលទោស តិះដៀល បន្តុះបង្អាប់ថា សមណៈ

អលជ្ជិនោ ឥមេ សមណា សក្យបុត្តិយា ទុស្សីលា មុសាវាទិនោ ឥមេ ហិ នាម ធម្មចារិនោ សមចារិនោ ព្រហ្មចារិនោ សច្ចវាទិនោ សីលវន្តោ កល្យាណធម្មា បដិជានិស្សន្តិ នត្ថិ ឥមេសំ សាមញ្ញំ នត្ថិ ឥមេសំ ព្រហ្មញ្ញំ នដ្ឋំ ឥមេសំ សាមញ្ញំ នដ្ឋំ ឥមេសំ ព្រហ្មញ្ញំ កុតោ ឥមេសំ សាមញ្ញំ កុតោ ឥមេសំ ព្រហ្មញ្ញំ អបគតា ឥមេ សាមញ្ញា អបគតា ឥមេ ព្រហ្មញ្ញា ឥមេ ឧបាសកស្ស មរណវណ្ណំ សំវណ្ណេសុំ ឥមេហិ ឧបាសកោ មារិតោតិ ។ អស្សោសុំ ខោ ភិក្ខូ តេសំ មនុស្សានំ ឧជ្ឈាយន្តានំ ខីយន្តានំ វិបាចេន្តានំ ។ យេ តេ ភិក្ខូ អប្បិច្ឆា ។ បេ ។ តេ ឧជ្ឈាយន្តិ ខីយន្តិ វិបាចេន្តិ កថំ ហិ នាម ឆព្វគ្គិយា ភិក្ខូ ឧបាសកស្ស មរណវណ្ណំ សំវណ្ណេស្សន្តីតិ ។ អថខោ តេ ភិក្ខូ ភគវតោ ឯតមត្ថំ អារោចេសុំ ។ បេ ។



ពួកនេះជាសក្យបុត្រ ជាមនុស្សថោកទាប ជាមនុស្សទ្រុស្តសីល ពោលតែពាក្យមុសា ពួកសមណៈទាំងនេះប្តេជ្ញាខ្លួនថាជាអ្នកប្រព្រឹត្តធម៌ ប្រព្រឹត្តស្មើ ប្រព្រឹត្តព្រហ្មចរិយធម៌ ពោលពាក្យសច្ច មានសីល មានកល្យាណធម៌ ដូចម្តេចបាន (ព្រោះ) សាមញ្ញគុណរបស់សមណៈទាំងនេះគ្មានទេ ព្រហ្មញ្ញគុណរបស់សមណៈទាំងនេះក៏គ្មានទេ សាមញ្ញគុណរបស់សមណៈទាំងនេះវិនាសអស់ហើយ ព្រហ្មញ្ញគុណរបស់សមណៈទាំងនេះវិនាសអស់ហើយ សាមញ្ញគុណរបស់សមណៈទាំងនេះនឹងមានមកពីណា ព្រហ្មញ្ញគុណរបស់សមណៈទាំងនេះនឹងមានមកពីណា ពួកសមណៈទាំងនេះប្រាសចាកសាមញ្ញគុណហើយ ពួកសមណៈទាំងនេះប្រាសចាកព្រហ្មញ្ញគុណហើយ (ព្រោះ) សមណៈទាំងនេះបានពណ៌នាគុណនៃសេចក្តីស្លាប់ដល់ឧបាសក ឧបាសកដែលស្លាប់គឺព្រោះតែសមណៈទាំងនេះ ។ ភិក្ខុទាំងឡាយបានឮមនុស្សពួកនោះកំពុងពោលទោស តិះដៀល បន្តុះបង្អាប់ ។ ពួកភិក្ខុណាជាអ្នកមានសេចក្តីប្រាថ្នាតិច ។ បេ ។ ភិក្ខុទាំងនោះក៏ពោលទោស តិះដៀល បន្តុះបង្អាប់ថា ហេតុម្តេចបានជា ពួកឆព្វគ្គិយភិក្ខុទៅពណ៌នាគុណនៃសេចក្តីស្លាប់ដល់ឧបាសក (ដូច្នេះ) ។ គ្រានោះឯង ពួកភិក្ខុទាំងនោះ បានក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ បេ ។

សច្ចំ កិរ តុម្ហេ ភិក្ខវេ ឧបាសកស្ស មរណវណ្ណំ
សំវណ្ណិត្ថាតិ ។ សច្ចំ ភគវាតិ ។ វិគរហិ ពុទ្ធោ ភគវា
អននុច្ឆវិកំ មោឃបុរិសា អននុលោមិកំ អប្បដិរូបំ
អស្សាមណកំ អកប្បិយំ អករណីយំ កថញ្ហិ នាម
តុម្ហេ មោឃបុរិសា ឧបាសកស្ស មរណវណ្ណំ សំ-
វណ្ណិស្សថ នេតំ មោឃបុរិសា អប្បសន្នានំ វា បសា-
ទាយ ។បេ។ ឯវញ្ច បន ភិក្ខវេ ឥមំ សិក្ខាបទំ
ឧទ្ទិសេយ្យាថ យោ បន ភិក្ខុ សញ្ចិច្ច មនុស្សវិគ្គហំ
ជីវិតា វោរោបេយ្យ សត្ថហារកំ វាស្ស បរិយេសេយ្យ
មរណវណ្ណំ វា សំវណ្ណេយ្យ មរណាយ វា សមាទបេយ្យ
អម្ភោ បុរិស កឹ តុយ្ហិមិនា បាបកេន ទុជ្ជីវិតេន
មតន្តេ ជីវិតា សេយ្យោតិ ឥតិ ចិត្តមនោ ចិត្តសង្កប្បោ





ព្រះបរមសាស្ដាត្រាស់សួរថា ម្នាលភិក្ខុទាំងឡាយ ឮថា អ្នកទាំងឡាយពណ៌នាគុណនៃសេចក្ដីស្លាប់ដល់ឧបាសក មែនឬ ។ ពួកភិក្ខុទាំងនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ពិតមែន ។ ព្រះពុទ្ធដ៏មានព្រះភាគទ្រង់តិះដៀលថា ម្នាលមោឃបុរសទាំងឡាយ (អំពើដែលអ្នកទាំងអស់គ្នាធ្វើហើយនុ៎ះ) មិនសមគួរ មិនត្រូវទំនង មិនត្រូវបែប មិនមែនជារបស់សមណៈ មិនគប្បី មិនគួរធ្វើសោះ ម្នាលមោឃ-បុរសទាំងឡាយ ហេតុម្ដេច បានជាអ្នកទាំងឡាយទៅពណ៌នាគុណនៃសេចក្ដីស្លាប់ដល់ឧបាសក (ដូច្នោះ) ម្នាលមោឃបុរសទាំងឡាយ អំពើនោះមិននាំឲ្យជ្រះថ្លាដល់ជនទាំងឡាយដែលមិនទាន់ជ្រះថ្លាទេ ។បេ។ ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយគប្បីសំដែងសិក្ខាបទនេះយ៉ាងនេះថា ភិក្ខុណាមួយក្លែងផ្ដាច់បង់នូវកាយរបស់មនុស្សឲ្យឃ្លាតចាកជីវិតក្ដី ទោះបីស្វែងរកគ្រឿងសស្ត្រាវុធ (ឬគ្រឿងសម្លាប់) ពីកាយមនុស្សនោះក្ដី ពណ៌នាគុណនៃសេចក្ដីស្លាប់ក្ដី ឬនិយាយណែនាំដើម្បីសេចក្ដីស្លាប់ថា នែបុរសដ៏ចំរើន អ្នកមានប្រយោជន៍អ្វីដោយជីវិតដ៏អាក្រក់លាមកនេះ អ្នកស្លាប់ទៅប្រសើរជាងរស់នៅ (ក្ដី) មានចិត្តគិតដូច្នោះ មានសេចក្ដីត្រិះរិះគិត

អនេកបរិយាយេន មរណវណ្ណំ វា សំវណ្ណេយ្យ មរណាយ វា សមាទបេយ្យ អយម្បិ បារាជិកោ ហោតិ អសំវាសោតិ ។

(១៨១) យោ បនាតិ យោ យាទិសោ ។បេ។ ភិក្ខូតិ ។បេ។ អយំ ឥមស្មឹ អត្ថេ អធិប្បេតោ ភិក្ខូតិ ។ សញ្ចិច្ចាតិ ជានន្តោ សញ្ជានន្តោ ចេច្ច អភិវិតរិត្វា វីតិក្កមោ ។ មនុស្សវិគ្គហោ នាម យំ មាតុកុច្ឆិស្មឹ បឋមំ ចិត្តំ ឧប្បន្នំ បឋមំ វិញ្ញាណំ បាតុភូតំ យាវ មរណកាលា ឯត្ថន្តរេ ឯសោ មនុស្សវិគ្គហោ នាម ។ ជីវិតា វោរោបេយ្យាតិ ជីវិតិន្ទ្រិយំ ឧបច្ឆិន្ទតិ ឧបរោធេតិ សន្តតឹ វិកោបេតិ ។ សត្ថហារកំ វាស្ស បរិយេសេយ្យាតិ អសឹ វា សត្តឹ វា ភេណ្ឌឹ វា លគុឡំ វា បាសាណំ វា សត្ថំ វា វិសំ វា រជ្ជុំ វា ។

(១៨២) មរណវណ្ណំ វា សំវណ្ណេយ្យាតិ ជីវិតេ អាទីនវំ ទស្សេតិ មរណេ វណ្ណំ ភណតិ ។



ចិត្តខ្លួនឯង ពណ៌នាគុណនៃសេចក្តីស្លាប់ ឬបបួលនាំដើម្បីសេចក្តីស្លាប់ដោយអនេកបរិយាយ ភិក្ខុនេះក្តី ហៅថាត្រូវអាបត្តិបារាជិក មិនមានសំវាសឡើយ ។

(១៨១) ត្រង់ពាក្យថា ភិក្ខុណាមួយ (ក្នុងបេយ្យាលពាក្យដើម មានសេចក្តីអធិប្បាយដូចក្នុងបារាជិកកណ្ឌទី ១) ។ ត្រង់បទថា ដឹង (នោះ) គឺដឹងជាក់ច្បាស់ហើយក្លែងសន្តាប់ ។ ដែលហៅថា កាយនៃមនុស្ស (នោះ) គឺបឋមចិត្តណាដែលកើតឡើងហើយ បឋមវិញ្ញាណណាដែលកើតឡើងប្រាកដហើយក្នុងផ្ទៃនៃមាតាដរាបដល់កាលស្លាប់ ក្នុងវេលាកាលប៉ុណ្ណេះ នេះឯងហៅថាកាយរបស់មនុស្ស ។ ត្រង់ពាក្យថា ផ្តាច់បង់ចាកជីវិត គឺចូលទៅផ្តាច់បង់ ញុំាងឥន្ទ្រិយគឺជីវិតឲ្យរលត់ទៅ គឺញុំាងសន្តតិ (វិថីនៃចិត្ត) ឲ្យកម្រើក ។ ត្រង់ពាក្យថា ឬបើស្វែងរកគ្រឿងសស្ត្រា (ឲ្យគេសម្លាប់) កាយមនុស្សនោះក្តី សេចក្តីថា គឺស្វែងរកដាវក្តី លំពែងក្តី ព្រួញក្តី ឈើស្រួចក្តី អន្ទាក់ក្តី ថ្មក្តី កាំបិតក្តី ថ្នាំពិសក្តី ខ្សែក្តី ។

(១៨២) ត្រង់ពាក្យថា ពណ៌នាគុណនៃសេចក្តីស្លាប់ក្តី សេចក្តីថា សំដែងទោសក្នុងជីវិតរស់នៅ ពោលសរសើរគុណក្នុងការស្លាប់ ។

(១៩៣) មរណាយ វា សមាទបេយ្យាតិ សត្ថំ វា អាហរ វិសំ វា ខាទ រជ្ជុយា វា ឧព្ពន្ធិត្វា កាលំ ករោហីតិ ។

(១៩៤) អម្ភោ បុរិសាតិ អាលបនាធិវចនមេតំ អម្ភោ បុរិសាតិ[១] ។ កិំ តុយ្ហិមិនា បាបកេន ទុជ្ជីវិតេន មតន្តេ ជីវិតា សេយ្យោតិ បាបកំ នាម ជីវិតំ អឌ្ឍានំ ជីវិតំ ឧបាទាយ ទលិទ្ទានំ ជីវិតំ បាបកំ សធនានំ ជីវិតំ ឧបាទាយ អធនានំ ជីវិតំ បាបកំ ទេវានំ ជីវិតំ ឧបាទាយ មនុស្សានំ ជីវិតំ បាបកំ ។ ទុជ្ជីវិតំ នាម ហត្ថច្ឆិន្នស្ស បាទច្ឆិន្នស្ស ហត្ថបាទច្ឆិន្នស្ស កណ្ណច្ឆិន្នស្ស នាសច្ឆិន្នស្ស កណ្ណនាសច្ឆិន្នស្ស ។ ឥមិនា ច បាបកេន ឥមិនា ច ទុជ្ជីវិតេន មតន្តេ

១ កេសុចិ ពោត្ថកេសុ ឥទំ វចនំ ន បញ្ញាយតិ ។

៤៤០

វិនយបិដក មហាវិភង្គ

(១៩៣) ត្រង់ពាក្យថា និយាយណែនាំដើម្បីសេចក្ដីស្លាប់ក្ដី សេចក្ដីថា និយាយណែនាំថា អ្នកចូរនាំគ្រឿងសស្ត្រមកក្ដី ថាអ្នកចូរស៊ីថ្នាំពិសក្ដី ថាអ្នកចូរចងកខ្លួនដោយខ្សែ ហើយធ្វើមរណកាលទៅក្ដី (យ៉ាងនេះហៅថា និយាយណែនាំដើម្បីសេចក្ដីស្លាប់) ។

(១៩៤) ត្រង់ពាក្យថា នែបុរសដ៏ចំរើន (នេះ) ជាឈ្មោះនៃពាក្យអាលបនៈ (ពាក្យស្រែកហៅ) ថា ម្នាលបុរសដ៏ចំរើន ។ ត្រង់ពាក្យថា អ្នកមានប្រយោជន៍អ្វីដោយជីវិតអាក្រក់លាមកនេះ អ្នកស្លាប់ទៅប្រសើរជាងការរស់នៅ មានអធិប្បាយថា ជីវិតរបស់ពួកមនុស្សកំសត់បើធៀបនឹងជីវិតរបស់ពួកមនុស្សស្ដុកស្ដម្ភ (គំហើញថា) ជាជីវិតលាមក ជីវិតរបស់ពួកមនុស្សឥតទ្រព្យ បើធៀបនឹងជីវិតរបស់ពួកមនុស្សមានទ្រព្យ (គំហើញថា) ជាជីវិតលាមក ជីវិតរបស់មនុស្សទាំងឡាយ បើធៀបនឹងជីវិតរបស់ទេវតាទាំងឡាយ (គំហើញថា) ជាជីវិតលាមក (យ៉ាងនេះ) ហៅថា ជីវិតលាមក ។ ជីវិតរបស់មនុស្សដាច់ដៃ ដាច់ជើង ដាច់ទាំងដៃទាំងជើង មនុស្សដាច់ត្រចៀក មនុស្សដាច់ច្រមុះ មនុស្សដាច់ទាំងត្រចៀកទាំងច្រមុះ (ទាំងនេះ) ហៅថា ជីវិតអាក្រក់ ។ អ្នកមានប្រយោជន៍អ្វីនឹងជីវិតដ៏លាមកនេះ នឹងជីវិតដ៏អាក្រក់នេះ អ្នកស្លាប់ទៅ

ជីវិតា វោរោបេយ្យ ។ ឥតិចិត្តមនោតិ យំ ចិត្តំ តំ មនោ យំ មនោ តំ ចិត្តំ ។ ចិត្តសង្កប្បោតិ មរណ-សញ្ញី មរណចេតនោ មរណាធិប្បាយោ ។ អនេក-បរិយាយេនាតិ ឧច្ចាវចេហិ អាការេហិ ។ មរណវណ្ណំ វា សំវណ្ណេយ្យាតិ ជីវិតេ អាទីនវំ ទស្សេតិ មរណេ វណ្ណំ ភណតិ ឥតោ ត្វំ កាលង្កតោ កាយស្ស ភេទា បរំ មរណា សុគតឹ សគ្គំ លោកំ ឧប-បជ្ជិស្សសិ តត្ថ ទិព្វេហិ បញ្ចហិ កាមគុណេហិ សមប្បិតោ សមង្គីភូតោ បរិចារេស្សសីតិ ។

(១៨៥) មរណាយ វា សមាទបេយ្យាតិ សត្ថំ វា អាហរ វិសំ វា ខាទ រជ្ជុយា វា ឧព្ពន្ធិត្វា កាលង្ករោហិ សោព្ភេ វា នរកេ វា បបាតេ វា បបតាតិ ។

(១៨៦) អយម្បីតិ បុរិមំ ឧបាទា-យ វុច្ចតិ ។ បារាជិកោ ហោតីតិ



ប្រាសចាកជីវិតទៅ ។ ត្រង់ពាក្យថា មានចិត្តគិតដូច្នេះ សេចក្ដីថា ធម្ម-ជាតណា ជាចិត្ត ធម្មជាតនោះជាមនោ ធម្មជាតណាជាមនោ ធម្មជាតនោះ គឺចិត្ត ។ ត្រង់ពាក្យថា មានសេចក្ដីត្រិះរិះក្នុងចិត្តដូច្នេះ សេចក្ដីថា មាន សេចក្ដីសំគាល់ក្នុងសេចក្ដីស្លាប់ មានចេតនាចង់ឲ្យស្លាប់ មានសេចក្ដីប៉ុនប៉ងចង់ឲ្យស្លាប់ ។ ត្រង់ពាក្យថា ដោយអនេកបរិយាយ គឺដោយអាការទាំងឡាយខ្ពស់និងទាប (ដោយទម្រាយច្រើនយ៉ាង) ។ ត្រង់ពាក្យថា ពណ៌នាគុណនៃសេចក្ដីស្លាប់ក្ដី អធិប្បាយថា ភិក្ខុសំដែងទោសក្នុងការរស់នៅ ពោលសរសើរគុណក្នុងការស្លាប់ទៅដូច្នេះថា អ្នកស្លាប់អំពីលោកនេះ គឺអ្នកលះនូវខន្ធស្លាប់ទៅកាន់បរលោក នឹងកើតក្នុងមនុស្សសុគតិ ឋានសួគ៌ អ្នកនឹងបានឆ្អែតស្កប់ស្កល់ (ឲ្យស្រេចតាមប្រាថ្នា) បម្រើដោយកាមគុណទាំង ៥ ដ៏ជាទិព្វក្នុងឋានសួគ៌នោះ ។

(១៨៥) ត្រង់ពាក្យថា ឬនិយាយណែនាំដើម្បីសេចក្ដីស្លាប់ សេចក្ដីថា (និយាយដឹកនាំ) ថាអ្នកចូរនាំគ្រឿងសស្ត្រាមកក្ដី អ្នកចូរស៊ីថ្នាំពិសក្ដី អ្នកចូរចងកដោយខ្សែហើយធ្វើកាលកិរិយាទៅក្ដី អ្នកចូរលោតទម្លាក់ទៅក្នុងបឹងក្ដី អណ្ដូងក្ដី ជ្រោះក្ដី ។

(១៨៦) ត្រង់ពាក្យថា ភិក្ខុនេះក្ដី មានសេចក្ដីអធិប្បាយដូចខាងដើម (ត្រង់បារាជិកកណ្ឌទី ១) ។ ត្រង់ពាក្យថា ត្រូវអាបត្តិបារាជិក អធិប្បាយ

សទ្ទុបហារោ គន្ធុបហារោ រសូបហារោ ផោដ្ឋព្វុបហារោ ធម្មុបហារោ អាចិក្ខនា អនុសាសនី សង្កេតកម្មំ និមិត្តកម្មន្តិ ។

(១៨៨) សាមន្តិ សយំ ហនតិ កាយេន វា កាយប្បដិពទ្ធេន វា និស្សគ្គិយេន វា ។ អធិដ្ឋាយាតិ អធិដ្ឋហិត្វា អាណាបេតិ ឯវំ វិជ្ឈ ឯវំ បហារ ឯវំ ឃាតេហីតិ ។

(១៨៩) ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ជីវិតា វោរោបេហីតិ អាបត្តិ ទុក្កដស្ស ។ សោ តំ មញ្ញមានោ តំ ជីវិតា វោរោបេតិ អាបត្តិ ឧភិន្នំ បារាជិកស្ស ។ ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ជីវិតា វោរោបេហីតិ អាបត្តិ ទុក្កដស្ស ។ សោ តំ មញ្ញមានោ អញ្ញំ ជីវិតា វោរោបេតិ មូលដ្ឋស្ស អនាបត្តិ វធកស្ស អាបត្តិ បារាជិកស្ស ។ ភិក្ខុ ភិក្ខុំ អាណាបេតិ



ដោយសម្លេង សម្លាប់ដោយក្លិន សម្លាប់ដោយរស សម្លាប់ដោយសម្ផស្ស សម្លាប់ដោយធម៌ បង្គាប់ឲ្យស្លាប់ ប្រៀនប្រដៅដើម្បីឲ្យស្លាប់ ធ្វើសង្កេតកម្ម ធ្វើនិមិត្តកម្ម ។

[១៨៨] ត្រង់ពាក្យថា ដោយខ្លួនឯង គឺភិក្ខុសម្លាប់ (គេ) ខ្លួនឯង ដោយកាយក្ដី ដោយគ្រឿងដែលជាប់នឹងកាយក្ដី ដោយគ្រឿងប្រយោលក្ដី ។ ត្រង់ពាក្យថា បង្គាប់ទុកនឹងចិត្ត សេចក្ដីថា បង្គាប់ (ទុកនឹងចិត្ត) ក៏បង្គាប់ថា អ្នកចូរចាក់យ៉ាងនេះ អ្នកចូរប្រហារយ៉ាងនេះ អ្នកចូរសម្លាប់យ៉ាងនេះ ។

[១៨៩] ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរផ្ដាច់បង់ជីវិតមនុស្សឈ្មោះនេះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកទទួលបង្គាប់នោះចំណាំមនុស្សនោះបាន ហើយផ្ដាច់បង់ជីវិតមនុស្សនោះ ត្រូវអាបត្តិបារាជិកទាំងពីររូប ។ ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរផ្ដាច់បង់ជីវិតមនុស្សឈ្មោះនេះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកទទួលបង្គាប់ចំណាំមនុស្សបាន (ប៉ុន្តែ) ទៅផ្ដាច់បង់ជីវិតមនុស្សដទៃវិញ ភិក្ខុអ្នកបង្គាប់មិនត្រូវអាបត្តិឡើយ ភិក្ខុអ្នកសម្លាប់ត្រូវអាបត្តិបារាជិក ។ ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរផ្ដាច់បង់

ឥត្ថន្នាមស្ស បាវទតុ ឥត្ថន្នាមោ ឥត្ថន្នាមំ ជីវិតា វោរោបេតូតិ អាបត្តិ ទុក្កដស្ស ។ សោ អញ្ញំ អាណាបេតិ អាបត្តិ ទុក្កដស្ស ។ វធកោ បដិគ្គណ្ហាតិ អាបត្តិ ទុក្កដស្ស ។ សោ តំ ជីវិតា វោរោបេតិ មូលដ្ឋស្ស អនាបត្តិ អាណាបកស្ស ច វធកស្ស ច អាបត្តិ បារាជិកស្ស ។

(១៩១) ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ជីវិតា វោរោបេហីតិ អាបត្តិ ទុក្កដស្ស ។ សោ គន្ត្វា បុន បច្ចាគច្ឆតិ នាហំ សក្កោមិ តំ ជីវិតា វោរោបេតុន្តិ ។ សោ បុន អាណាបេតិ យទា សក្កោសិ តទា តំ ជីវិតា វោរោបេហីតិ អាបត្តិ ទុក្កដស្ស ។ សោ តំ ជីវិតា វោរោបេតិ អាបត្តិ ឧភិន្នំ បារាជិកស្ស ។

(១៩២) ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ជីវិតា វោរោបេហីតិ អាបត្តិ ទុក្កដស្ស ។ សោ តំ អាណាបេត្វា វិប្បដិសារី ន សាវេតិ មា ឃាតេហីតិ ។ សោ



ទៅប្រាប់ភិក្ខុឈ្មោះនេះថា ភិក្ខុឈ្មោះនេះចូរទៅផ្តាច់បង់ជីវិតបុគ្គលឈ្មោះនេះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកទទួលបង្គាប់នោះទៅបង្គាប់ភិក្ខុឯទៀតវិញ (ដូចទទួលបង្គាប់ដូច្នេះ) ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកសម្លាប់ទទួលបង្គាប់ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកសម្លាប់នោះ បានផ្តាច់បង់ជីវិតបុគ្គលនោះសម្រេច ភិក្ខុអ្នកបង្គាប់ដើមមិនត្រូវអាបត្តិឡើយ ត្រូវអាបត្តិបារាជិកដល់ភិក្ខុអ្នកបង្គាប់ នឹងភិក្ខុអ្នកសម្លាប់ ។

(១៩១) ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរផ្តាច់បង់ជីវិតបុគ្គលឈ្មោះនេះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុអ្នកទទួលបង្គាប់នោះទៅហើយត្រឡប់មកប្រាប់វិញថា ខ្ញុំមិនអាចនឹងផ្តាច់បង់ជីវិតបុគ្គលនោះបាន ។ ភិក្ខុនោះបង្គាប់ទៀតថា លោកអាចក្នុងកាលណា លោកចូរទៅផ្តាច់បង់ជីវិតគេក្នុងកាលនោះចុះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ លុះភិក្ខុអ្នកទទួលបង្គាប់នោះ បានផ្តាច់បង់ជីវិតបុគ្គលនោះសម្រេច ក៏ត្រូវអាបត្តិបារាជិកទាំងពីររូប ។

(១៩២) ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរទៅផ្តាច់បង់ជីវិតបុគ្គលឈ្មោះនេះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុនោះលុះបង្គាប់ភិក្ខុដទៃនោះហើយ ក៏ស្រាប់តែកើតសេចក្តីក្តៅក្រហាយ (ស្តាយក្រោយ) តែមិនបានប្រាប់ឲ្យឮថា លោកកុំទៅសម្លាប់ដូច្នេះទេ ។ ភិក្ខុអ្នកទទួលបង្គាប់

តំ ជីវិតា វោរោបេតិ អាបត្តិ ឧភិន្នំ បារា-ជិកស្ស ។ ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ជីវិតា វោរោបេហីតិ អាបត្តិ ទុក្កដស្ស ។ សោ អាណាបេត្វា វិប្បដិសារី សាវេតិ មា ឃាតេហីតិ ។ សោ អាណត្តោ អហំ តយាតិ តំ ជីវិតា វោរោបេតិ មូលដ្ឋស្ស អនាបត្តិ វធកស្ស អាបត្តិ បារាជិកស្ស ។ ភិក្ខុ ភិក្ខុំ អាណាបេតិ ឥត្ថន្នាមំ ជីវិតា វោរោបេហីតិ អាបត្តិ ទុក្កដស្ស ។ សោ អាណាបេត្វា វិប្បដិសារី សាវេតិ មា ឃាតេហីតិ ។ សោ សាធូតិ ឱរមតិ ឧភិន្នំ អនាបត្តិ ។

[១៨៣] អរហោ រហោសញ្ញី ឧល្លបតិ អហោ ឥត្ថន្នាមោ ហតោ អស្សាតិ អាបត្តិ ទុក្កដស្ស ។ រហោ អរហោសញ្ញី ឧល្លបតិ អហោ ឥត្ថន្នាមោ ហតោ អស្សាតិ អាបត្តិ ទុក្កដស្ស ។ អរហោ អរហោសញ្ញី ឧល្លបតិ អហោ ឥត្ថន្នាមោ ហតោ អស្សាតិ



លុះផ្ដាច់បង់ជីវិតបុគ្គលនោះស្រេច ក៏ត្រូវអាបត្តិបារាជិកទាំងពីររូប ។ ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរទៅផ្ដាច់បង់ជីវិតបុគ្គលឈ្មោះនេះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ (បើ) ភិក្ខុនោះលុះបង្គាប់រួចហើយក៏ស្រាប់តែកើតសេចក្ដីក្ដៅក្រហាយ (ស្ដាយក្រោយ) ទើបប្រាប់វិញថា លោកកុំទៅសម្លាប់ឡើយ ។ ភិក្ខុនោះតបថា លោកបង្គាប់ខ្ញុំហើយ ក៏ទៅផ្ដាច់ជីវិតបុគ្គលនោះទៅ (យ៉ាងនេះ) ភិក្ខុអ្នកប្រើដើមមិនត្រូវអាបត្តិទេ ត្រូវអាបត្តិបារាជិកតែអ្នកសម្លាប់ ។ ភិក្ខុបង្គាប់ភិក្ខុដទៃថា លោកចូរទៅផ្ដាច់ជីវិតបុគ្គលឈ្មោះនេះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ លុះភិក្ខុនោះបង្គាប់ហើយក៏កើតសេចក្ដីក្ដៅក្រហាយ (ស្ដាយក្រោយ) ទើបប្រាប់វិញថា លោកកុំទៅសម្លាប់ឡើយ ។ ភិក្ខុអ្នកសម្លាប់នោះទទួលថា សាធុ ហើយឈប់វិញ (ដូច្នេះ) មិនត្រូវអាបត្តិទាំងពីររូប ។

[១៨៣] ភិក្ខុសំគាល់ទីដែលមិនស្ងាត់ថាទីស្ងាត់ ទើបពោលថា ឱ បុគ្គលឈ្មោះនេះគួរត្រូវគេសម្លាប់ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុសំ-គាល់ទីដែលស្ងាត់ថាទីមិនស្ងាត់ ទើបពោលថា ឱ បុគ្គលឈ្មោះនេះ សូមឲ្យវិនាសទៅចុះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុសំគាល់ទីដែលមិនស្ងាត់ថាទីមិនស្ងាត់ ទើបពោលថា ឱ បុគ្គលឈ្មោះនេះ សូមវិនាសទៅចុះ ដូច្នេះ

អាបត្តិ ទុក្កដស្ស ។ រយោ រយោសញ្ញី ឧល្លបតិ អយោ ឥត្ថន្នាមោ ឃាតោ អស្សាតិ អាបត្តិ ទុក្កដស្ស ។

(១៩៦) កាយេន សំវណ្ណេតិ នាម កាយេន វិការំ ករោតិ យោ ឯវំ មរតិ សោ ធនំ វា លភតិ យសំ វា លភតិ សគ្គំ វា គច្ឆតីតិ អាបត្តិ ទុក្កដស្ស ។ កាយសំវណ្ណនាយ មរិស្សាមីតិ ទុក្ខំ វេទនំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ វាចាយ សំវណ្ណេតិ នាម វាចាយ ភណតិ យោ ឯវំ មរតិ សោ ធនំ វា លភតិ យសំ វា លភតិ សគ្គំ វា គច្ឆតីតិ អាបត្តិ ទុក្កដស្ស ។ វាចាយ សំវណ្ណនាយ មរិស្សាមីតិ ទុក្ខំ វេទនំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ កាយេន វាចាយ សំវណ្ណេតិ នាម កាយេន ច វិការំ ករោតិ វាចាយ ច ភណតិ



ត្រូវអាបត្តិទុក្កដ ។ ភិក្ខុសំគាល់ទាល់ដែលស្លាក់ថាស្លាក់ ទើបពោលថា ៖ បុគ្គលឈ្មោះនេះ សូមឲ្យវិនាសទៅចុះ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។

(១៩៦) ដែលហៅថា ពណ៌នាដោយកាយ (នោះ) គឺភិក្ខុធ្វើអាការដោយកាយដូច្នេះ បុគ្គលណាស្លាប់ទៅយ៉ាងនេះ បុគ្គលនោះនឹងបានទ្រព្យ ឬនឹងបានយសស័ក្តិ ឬនឹងទៅកាន់ស្ថានសួគ៌ (ភិក្ខុធ្វើយ៉ាងនេះ) ត្រូវអាបត្តិទុក្កដ ។ (បើមនុស្សស្តាប់សេចក្តីពណ៌នានោះហើយ) ញ៉ាំងទុក្ខវេទនាឲ្យកើតឡើងដោយគិតថា អញនឹងស្លាប់ដោយកិរិយាពោលពណ៌នានោះ ដូច្នេះ ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើ) មនុស្សនោះស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ដែលហៅថា ពោលពណ៌នាដោយវាចា (នោះ) គឺភិក្ខុពោលដោយវាចាថា បុគ្គលណាស្លាប់យ៉ាងនេះ បុគ្គលនោះនឹងបានទ្រព្យ ឬបានយសស័ក្តិ ឬទៅកាន់ស្ថានសួគ៌ ភិក្ខុនោះត្រូវអាបត្តិទុក្កដ ។ (បើមនុស្សស្តាប់សេចក្តីពណ៌នានោះហើយ) ញ៉ាំងទុក្ខវេទនាឲ្យកើតឡើង ដោយគិតថា អញនឹងស្លាប់ដោយកិរិយាពោលពណ៌នានោះ ដូច្នេះ ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើបុគ្គលនោះ) ស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ដែលហៅថា ពោលពណ៌នាដោយកាយនិងវាចា (នោះ) គឺភិក្ខុធ្វើអាការដោយកាយផង ពោលដោយវាចាផង

យោ ឯវំ មរតិ សោ ធនំ វា លភតិ យសំ វា លភតិ សគ្គំ វា គច្ឆតីតិ អាបត្តិ ទុក្កដស្ស ។ តាយ សំវណ្ណនាយ មរិស្សាមីតិ ទុក្ខំ វេទនំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។

(១៩៨) ទូតេន សំវណ្ណេតិ នាម ទូតស្ស សាសនំ អារោចេតិ យោ ឯវំ មរតិ សោ ធនំ វា លភតិ យសំ វា លភតិ សគ្គំ វា គច្ឆតីតិ អាបត្តិ ទុក្កដស្ស ។ ទូតស្ស សាសនំ សុត្វា មរិស្សាមីតិ ទុក្ខំ វេទនំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ លេខាយ សំវណ្ណេតិ នាម លេខំ ឆិន្ទតិ យោ ឯវំ មរតិ សោ ធនំ វា លភតិ យសំ វា លភតិ សគ្គំ វា គច្ឆតីតិ អក្ខរក្ខរាយ អាបត្តិ ទុក្កដស្ស ។ លេខំ បស្សិត្វា មរិស្សាមីតិ ទុក្ខំ វេទនំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។



ដូច្នេះថា បុគ្គលណាស្លាប់ទៅយ៉ាងនេះ បុគ្គលនោះនឹងបានទ្រព្យ ឬបានយសស័ក្តិ ឬទៅកាន់ស្ថានសួគ៌ ភិក្ខុនោះត្រូវអាបត្តិទុក្កដ ។ (បើមនុស្សស្តាប់សេចក្តីពណ៌នានោះហើយ) ញុំាងទុក្ខវេទនាឲ្យកើតឡើង ដោយគិតថា អញនឹងស្លាប់ដោយកិរិយាពោលពណ៌នានោះ ដូច្នេះ ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ បើបុគ្គលនោះស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។

(១៩៨) ដែលហៅថា ពោលពណ៌នាដោយប្រើបម្រើ (នោះ) គឺភិក្ខុប្រាប់ដំណឹងដល់បម្រើថា បុគ្គលណាស្លាប់យ៉ាងនេះ បុគ្គលនោះនឹងបានទ្រព្យ ឬបានយសស័ក្តិ ឬក៏នោះទៅកាន់ស្ថានសួគ៌ ដូច្នេះ ភិក្ខុត្រូវអាបត្តិទុក្កដ ។ (បើ) បុគ្គលនោះបានស្តាប់ដំណឹងរបស់បម្រើ ហើយគិតថា អញនឹងស្លាប់ ហើយក៏ញុំាងទុក្ខវេទនាឲ្យកើតឡើង ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើ) បុគ្គលនោះស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ដែលហៅថា ពណ៌នាដោយវិធីសរសេរអក្សរ (នោះ) គឺភិក្ខុចារអក្សរ (ជាសេចក្តី) ថា បុគ្គលណាស្លាប់ទៅយ៉ាងនេះ បុគ្គលនោះនឹងបានទ្រព្យ ឬបានយសស័ក្តិ ឬទៅកាន់ស្ថានសួគ៌ ដូច្នេះ ត្រូវអាបត្តិទុក្កដគ្រប់ៗអក្សរ ។ (បុគ្គលនោះ) ឃើញអក្សរនោះហើយគិតថា អញនឹងស្លាប់ទៅហើយ ញុំាងទុក្ខវេទនាឲ្យកើតឡើង ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើ) បុគ្គលនោះស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។

ឥមំ សុត្វា ឧត្តសិត្វា មរិស្សតីតិ អាបត្តិ ទុក្កដស្ស ។ តំ សុត្វា ឧត្តសតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ មនាបិកំ សទ្ទំ ឧបសំហរតិ បេមនីយំ(១) ហទយង្គមំ(២) ឥមំ សុត្វា អលាភកេន សុស្សិត្វា មរិស្សតីតិ អាបត្តិ ទុក្កដស្ស ។ តំ សុត្វា អលាភកេន សុស្សតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ គន្ធូបហារោ នាម អមនាបិកំ គន្ធំ ឧបសំហរតិ ជេគុច្ឆំ បាដិកុល្យំ ឥមំ ឃាយិត្វា ជេគុច្ឆតា បាដិកុល្យតា មរិស្សតីតិ អាបត្តិ ទុក្កដស្ស ។ តំ ឃាយិតេ ជេគុច្ឆតា បាដិកុល្យតា ទុក្ខា វេទនា ឧប្បជ្ជតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ មនាបិកំ គន្ធំ ឧបសំហរតិ ឥមំ ឃាយិត្វា អលាភកេន សុស្សិត្វា មរិស្សតីតិ អាបត្តិ ទុក្កដស្ស ។ តំ ឃាយិត្វា អលាភកេន សុស្សតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ រសូបហារោ នាម

១-២ ពីរ បទ នេះ [illegible] ។



ណាមួយ បានឮសម្ដីនេះហើយ នឹងតក់ស្លុតស្លាប់ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ លុះមនុស្សឮសម្ដីនោះហើយតក់ស្លុត ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើ) គេស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ភិក្ខុនាំយកសម្ដីជាទីគាប់ចិត្ត គួរស្រឡាញ់ ចូលទៅដល់ចិត្ត ដោយគំនិតថា មនុស្សណាមួយបានឮសម្ដីនេះហើយ នឹងក្រៀមក្រំស្លាប់ ព្រោះចង់បានមិនបាន ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ លុះមនុស្សឮសម្ដីនោះហើយក្រៀមក្រំចិត្ត ព្រោះចង់បានមិនបាន ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើ) មនុស្សនោះស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ដែលហៅថា សម្លាប់ដោយក្លិន (នោះ) គឺភិក្ខុនាំយកក្លិនមិនគាប់ចិត្ត គួរខ្ពើមរអើម ដោយគំនិតថា មនុស្សណាមួយហិតក្លិនហើយនឹងស្លាប់ ព្រោះសេចក្ដីខ្ពើម គួរខ្ពើម ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ កាលបើគេហិតក្លិននោះហើយ មានទុក្ខវេទនាកើតឡើង ព្រោះខ្ពើម ព្រោះរអើម ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ គេស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ភិក្ខុនាំយកក្លិនជាទីគាប់ចិត្តចូលទៅដោយគំនិតថា មនុស្សណាមួយបានហិតក្លិននេះហើយ នឹងក្រៀមក្រំស្លាប់ ព្រោះចង់បានមិនបាន ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ លុះគេហិតក្លិននោះហើយក្រៀមក្រំព្រោះមិនបាន ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើ) គេស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ដែលហៅថា សម្លាប់ដោយរស

ទុក្ខសម្ផស្សំ ផុសតិ ផុដ្ឋោ អមនាបេន សុស្សិត្វា មរិស្សតីតិ អាបត្តិ ទុក្កដស្ស ។ តេន ផុដ្ឋោ អមនាបេន សុស្សតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ ធម្មូបហារោ នាម នេរយិកស្ស និរយកថំ កថេតិ ឥទំ សុត្វា ឧត្តសិត្វា មរិស្សតីតិ អាបត្តិ ទុក្កដស្ស ។ តំ សុត្វា ឧត្តសតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ កល្យាណកម្មស្ស សគ្គកថំ កថេតិ ឥទំ សុត្វា អធិមុត្តោ មរិស្សតីតិ អាបត្តិ ទុក្កដស្ស ។ តំ សុត្វា អធិមុត្តោ មរិស្សាមីតិ ទុក្ខំ វេទនំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។

[៦០១] អាចិក្ខនា នាម បុដ្ឋោ ភណតិ ឯវំ មរស្សុ យោ



ដោយគំនិតថា បុគ្គលណាមួយមកពាល់ត្រូវសម្ផស្សនេះហើយ នឹងក្រៀមក្រំស្លាប់ ព្រោះមិនបាន (តាមប្រាថ្នា) ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ លុះគេពាល់ត្រូវសម្ផស្សនោះហើយ កើតក្រៀមក្រំ ព្រោះមិនបាន (តាមប្រាថ្នា) ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើ) គេស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ដែលហៅថា សម្លាប់ដោយធម៌នោះ គឺភិក្ខុពោលអំពីរឿងនរកនៃសត្វដែលទៅកើតក្នុងនរក ដោយគំនិតថា មនុស្សណាមួយបានស្តាប់រឿងនរកនេះហើយ នឹងតក់ស្លុតហើយស្លាប់ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ លុះគេបានស្តាប់រឿងនរកនោះហើយកើតតក់ស្លុត ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើ) គេស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ភិក្ខុពោលអំពីរឿងស្ថានសួគ៌នៃបុគ្គលដែលបានធ្វើកម្មដ៏ល្អ ដោយគំនិតថា មនុស្សណាមួយបានស្តាប់និទានអំពីស្ថានសួគ៌នេះហើយ នឹងអន់ផ្តើមស្លាប់ ដូច្នេះត្រូវអាបត្តិទុក្កដ ។ លុះគេបានស្តាប់និទានអំពីស្ថានសួគ៌នោះហើយ ញ៉ាំងទុក្ខវេទនាឲ្យកើតឡើងដោយគិតថា អញនឹងអន់ផ្តើមស្លាប់ដូច្នេះ ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ (បើ) គេស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។

[៦០១] ដែលហៅថា បង្គាប់ឲ្យស្លាប់ (នោះ) គឺថាមនុស្សសួរភិក្ខុ ។ ឆ្លើយថា អ្នកឯងចូរស្លាប់ទៅយ៉ាងនេះចុះ ព្រោះបុគ្គលណាមួយ

ឯវំ មរតិ សោ ធនំ វា លភតិ យសំ វា លភតិ សគ្គំ វា គច្ឆតីតិ អាបត្តិ ទុក្កដស្ស ។ តាយ អាចិក្ខនាយ មរិស្សាមីតិ ទុក្ខំ វេទនំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។ អនុសាសនី នាម អមុទ្ទោ ភណតិ ឯវំ មរស្សុ យោ ឯវំ មរតិ សោ ធនំ វា លភតិ យសំ វា លភតិ សគ្គំ វា គច្ឆតីតិ អាបត្តិ ទុក្កដស្ស ។ តាយ អនុសាសនិយា មរិស្សាមីតិ ទុក្ខំ វេទនំ ឧប្បាទេតិ អាបត្តិ ថុល្លច្ចយស្ស ។ មរតិ អាបត្តិ បារាជិកស្ស ។

[២០២] សង្កេតកម្មំ នាម សង្កេតំ ករោតិ បុរេភត្តំ វា បច្ឆាភត្តំ វា រត្តឹ វា ទិវា វា តេន សង្កេតេន តំ ជីវិតា វោរោបេហីតិ អាបត្តិ ទុក្កដស្ស ។ តេន សង្កេតេន តំ ជីវិតា វោរោបេតិ អាបត្តិ បារាជិកស្ស ។ តំ



ស្លាប់ទៅយ៉ាងនេះ បុគ្គលនោះនឹងបានទ្រព្យ ឬបានយសស័ក្តិ ឬទៅកាន់ស្ថានសួគ៌ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ បុគ្គលនោះញ៉ាំងទុក្ខវេទនាឲ្យកើតឡើង ដោយគិតថា អញនឹងស្លាប់ តាមបង្គាប់នោះ ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ លុះគេស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។ ដែលហៅថា រៀនប្រដៅដើម្បីឲ្យស្លាប់ (នោះ) គឺគេមិនបានសួរភិក្ខុទេ តែភិក្ខុនិយាយថា អ្នកចូរស្លាប់យ៉ាងនេះចុះ (ព្រោះ) បុគ្គលណាស្លាប់ទៅយ៉ាងនេះ បុគ្គលនោះនឹងបានទ្រព្យ ឬបានយសស័ក្តិ ឬទៅកាន់ស្ថានសួគ៌ ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ ព្រោះពាក្យរៀនប្រដៅប៉ុណ្ណោះ បើបុគ្គលនោះញ៉ាំងទុក្ខវេទនាឲ្យកើតឡើង ដោយគិតថា អញនឹងស្លាប់ ដូច្នេះ ភិក្ខុត្រូវអាបត្តិថុល្លច្ច័យ ។ លុះបុគ្គលនោះស្លាប់ ភិក្ខុត្រូវអាបត្តិបារាជិក ។

[២០២] ដែលហៅថា ធ្វើសង្កេតកម្ម (នោះ) គឺភិក្ខុកំណត់ពេលថា លោកចូរទៅផ្តាច់បង់ជីវិតបុគ្គលនោះ តាមសេចក្តីកំណត់នោះ ពេលនៅវេលាមុនបាយក្តី ក្រោយបាយក្តី យប់ក្តី ថ្ងៃក្តី ដូច្នេះ ត្រូវអាបត្តិទុក្កដ ។ បើភិក្ខុនោះឯងបង្គាប់ទៅផ្តាច់បង់ជីវិតបុគ្គលនោះ តាមសេចក្តីកំណត់នោះ ត្រូវអាបត្តិបារាជិកតាំងពីក្បួន ។ (បើ) ភិក្ខុនោះឯងបង្គាប់ទៅផ្តាច់បង់ជីវិត

មរណវណ្ណំ សំវណ្ណេសុំ ។ សោ ភិក្ខុ កាលម-កាសិ ។ តេសំ កុក្កុច្ចំ អហោសិ កច្ចិ នុ ខោ មយំ បារាជិកំ អាបត្តឹ អាបន្នាតិ ។ អថខោ តេ ភិក្ខូ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អាបត្តឹ តុម្ហេ ភិក្ខវេ អាបន្នា បារាជិកន្តិ ។

[២០៦] តេន ខោ បន សមយេន អញ្ញតរោ បិណ្ឌចារិកោ ភិក្ខុ បីឋកេ បិលោតិកាយ បដិច្ឆន្នំ ទារកំ និសីទន្តោ ឱត្ថរិត្វា មារេសិ ។ តស្ស កុក្កុច្ចំ អហោសិ កច្ចិ នុ ខោ អហំ បារាជិកំ អាបត្តឹ អាបន្នោតិ ។ អថខោ សោ ភិក្ខុ ភគវតោ ឯត-មត្ថំ អារោចេសិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស ន ច ភិក្ខវេ អប្បដិវេក្ខិត្វា អាសនេ និសីទិតព្វំ យោ និសីទេយ្យ អាបត្តិ ទុក្កដស្សាតិ ។

[២០៧] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អន្តរឃរេ អាសនំ បញ្ញាបេន្តោ មុសលេ ឧស្សាបេន្តោ ឯកំ មុសលំ អគ្គហេសិ ។ ទុតិយោ មុសលោ បរិវត្តិត្វា អញ្ញតរស្ស ទារកស្ស មត្ថកេ អវត្ថាសិ ។



ពណ៌នាភាសា ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ ទើបភិក្ខុទាំងនោះមានសេចក្ដីសង្ស័យថា យើងទាំងឡាយត្រូវអាបត្តិបារាជិកទេដឹង ។ ភិក្ខុទាំងនោះ ក៏ក្រាបទូលសេចក្ដីនុ៎ះ ចំពោះព្រះដ៏មានព្រះភាគក្នុងកាលនោះឯង ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយត្រូវអាបត្តិបារាជិកហើយ ។

[២០៦] សម័យនោះឯង មានភិក្ខុមួយរូបកាន់បិណ្ឌបាតជាវត្ត អង្គុយសង្កត់ក្មេងដែលគេដណ្ដប់ដោយកំណាត់សំពត់នៅលើតាំងស្លាប់ទៅ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យថា អាត្មាត្រូវអាបត្តិបារាជិកទេដឹង ។ ទើបភិក្ខុនោះក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ម្នាលភិក្ខុទាំងឡាយ បើភិក្ខុមិនពិចារណាមើលទេ មិនគួរអង្គុយលើអាសនៈ ភិក្ខុណាអង្គុយ (ភិក្ខុនោះ) ត្រូវអាបត្តិទុក្កដ ។

[២០៧] សម័យនោះឯង មានភិក្ខុមួយរូបឲ្យគេក្រាលអាសនៈក្នុងត្រង់ចន្លោះផ្ទះ ហើយបានឈោងទៅចាប់អង្រែមួយ អង្រែក្នុងទីដែលគេបញ្ឈរទៅ ។ អង្រែជាគំរប់ពីររំលំទៅសង្កត់លើក្បាលទារកម្នាក់ ។

សោ កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ កិំចិត្តោ ត្វំ ភិក្ខូតិ ។ អសញ្ចិច្ច អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ អសញ្ចិច្ចាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ ភត្តគ្គេ អត្ថាយេ អាសនំ បញ្ញាបេន្តោ ឧទុក្ខលភណ្ឌិកំ អក្កមិត្វា បវដ្ដេសិ អញ្ញតរំ ធារកោ ទុត្តិកា មារេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អសញ្ចិច្ចាតិ ។

[៦០៨] តេន ខោ បន សមយេន បិតាបុត្តា ភិក្ខូសុ បព្វជិតា ហោន្តិ ។ កាលេ អារោចិតេ បុត្តោ បិតរំ ឯតទវោច គច្ឆ ភន្តេ សង្ឃោ តំ បដិមានេតីតិ បិដ្ឋិយំ គហេត្វា បណាមេសិ ។ សោ បបតិត្វា កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ កិំចិត្តោ ត្វំ ភិក្ខូតិ ។ នាហំ ភគវា មរណាធិប្បាយោតិ ។ អនាបត្តិ ភិក្ខុ



ទារកនោះក៏ដល់មរណកាលទៅ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គត្រាស់សួរថា ម្នាលភិក្ខុ អ្នកមានចិត្តគិតដូចម្ដេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមិនបានក្លែងទេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ (បើ) មិនក្លែង មិនត្រូវអាបត្តិទេ ។ សម័យនោះឯង មានភិក្ខុមួយរូប ឲ្យគេក្រាលអាសនៈក្នុងរោងភត្ត ត្រដិចជោះផុះ បានទៅជាន់ឈើដែលគេសម្រាប់ចម្អល់ត្បាល់ ឲ្យរមៀលទៅសង្កត់ទារកម្នាក់ស្លាប់ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ (បើ) មិនក្លែង មិនត្រូវអាបត្តិទេ ។

[៦០៨] សម័យនោះឯង បិតានិងបុត្របានចេញបួសក្នុងសំណាក់ភិក្ខុទាំងឡាយ ។ កាលដល់ពេលបង្គាន់គេបានប្រាប់ហើយ ភិក្ខុជាបុត្របាននិយាយនឹងភិក្ខុជាបិតាថា បពិត្រលោកម្ចាស់ដ៏ចម្រើន លោកម្ចាស់អញ្ជើញទៅចុះ ព្រះសង្ឃរង់ចាំលោកម្ចាស់ (ថាហើយក៏) ចាប់ខ្នងច្រានទៅ ។ ភិក្ខុជាបិតានោះក៏ដួលស្លាប់ ។ ភិក្ខុជាកូននោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តដូចម្ដេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គឥតមានបំណងឲ្យស្លាប់ទេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ (បើ) មិនមានបំណងឲ្យស្លាប់ទេ

សោ ភិក្ខុ កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អសញ្ចិច្ចាតិ ។ តេន ខោ បន សមយេន អាឡវិកា ភិក្ខូ វិហារវត្ថុំ ករោន្តិ ។ អញ្ញតរោ ភិក្ខុ ហេដ្ឋា ហុត្វា សិលំ ឧច្ចារេសិ ។ ឧបរិមោ ភិក្ខុ មរណាធិប្បាយោ ហេដ្ឋិមស្ស ភិក្ខុនោ មត្ថកេ សិលំ មុញ្ចិ ។ សោ ភិក្ខុ កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តិំ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អាឡវិកា ភិក្ខូ វិហារវត្ថុំ ករោន្តិ ។ អញ្ញតរោ ភិក្ខុ ហេដ្ឋា ហុត្វា សិលំ ឧច្ចារេសិ ។ ឧបរិមោ ភិក្ខុ មរណាធិប្បាយោ ហេដ្ឋិមស្ស ភិក្ខុនោ មត្ថកេ សិលំ មុញ្ចិ ។ សោ ភិក្ខុ ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អាឡវិកា ភិក្ខូ វិហារស្ស កុឌ្ឌំ ឧដ្ឋាបេន្តិ ។ អញ្ញតរោ ភិក្ខុ ហេដ្ឋា ហុត្វា ឥដ្ឋកំ ឧច្ចារេសិ ។



ភិក្ខុក្រោមថ្មធ្លាក់លើនោះក៏ស្លាប់ទៅ ។ ភិក្ខុអ្នកទម្លាក់ថ្មនោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិទេ ព្រោះមិនបានក្លែង ។ សម័យនោះឯង ពួកភិក្ខុស្រុកអាឡវី (នាំគ្នា) រៀបចំទីវត្ត ។ មានភិក្ខុមួយរូបនៅខាងក្រោមហុចថ្មទៅលើ ។ ភិក្ខុអ្នកនៅខាងលើ មានចំណងចង់សម្លាប់ ក៏ទម្លាក់ថ្មមកចំក្បាលភិក្ខុអ្នកនៅខាងក្រោម ។ ភិក្ខុនោះស្លាប់ ។ ភិក្ខុអ្នកទម្លាក់ថ្មនោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង ពួកភិក្ខុនៅស្រុកអាឡវី (នាំគ្នា) រៀបចំទីវត្ត ។ មានភិក្ខុមួយរូប (ទៀត) នៅខាងក្រោមចាប់ហុចថ្មទៅ ។ ភិក្ខុនៅខាងលើមានចំណងចង់សម្លាប់ (ភិក្ខុនៅខាងក្រោម) ទើបទម្លាក់ថ្មមកចំក្បាលភិក្ខុនៅខាងក្រោមនោះ ។ ភិក្ខុនោះមិនស្លាប់ ។ ភិក្ខុអ្នកទម្លាក់ថ្មនោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង ពួកភិក្ខុនៅស្រុកអាឡវី (នាំគ្នា) លើកជញ្ជាំងវិហារ ។ មានភិក្ខុមួយរូបនៅខាងក្រោមហុចឥដ្ឋទៅខាងលើ ។

ឧបរិមោ ភិក្ខុ មរណាធិប្បាយោ ហេដ្ឋិមស្ស ភិក្ខុនោ មត្ថកេ ភិសឹ មុញ្ចិ ។ សោ ភិក្ខុ កាលមកាសិ ។ បេ ។ សោ ភិក្ខុ ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អាឡវិកា ភិក្ខូ នវកម្មំ ករោន្តិ ។ អញ្ញតរោ ភិក្ខុ ហេដ្ឋា ហុត្វា គោបានសឹ ឧក្ខិបតិ ។ ឧបរិមេន ភិក្ខុនា ទុគ្គហិតា គោបានសី ហេដ្ឋិមស្ស ភិក្ខុនោ មត្ថកេ អវត្ថាសិ ។ សោ ភិក្ខុ កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អសញ្ចិច្ចស្សាតិ ។ តេន ខោ បន សមយេន អាឡវិកា ភិក្ខូ នវកម្មំ ករោន្តិ ។ អញ្ញតរោ ភិក្ខុ ហេដ្ឋា ហុត្វា គោបានសឹ ឧក្ខិបតិ ។ ឧបរិមោ ភិក្ខុ មរណាធិប្បាយោ ហេដ្ឋិមស្ស ភិក្ខុនោ មត្ថកេ គោបានសឹ មុញ្ចិ ។ សោ ភិក្ខុ កាលមកាសិ ។ បេ ។ សោ ភិក្ខុ ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ



ភិក្ខុនៅខាងលើមានចំណង់ចង់សម្លាប់ (ភិក្ខុនៅខាងក្រោម) ទើបទម្លាក់កម្រាលក្រោមចំក្បាលភិក្ខុនៅខាងក្រោម ។ ភិក្ខុនោះធ្វើកាលកិរិយាទៅ ។ បេ ។ ភិក្ខុនោះមិនបានធ្វើកាលកិរិយា ។ ភិក្ខុអ្នកទម្លាក់កម្រាលនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង ពួកភិក្ខុនៅដែនអាឡវី (នាំគ្នា) ធ្វើនវកម្ម ។ មានភិក្ខុមួយរូបនៅខាងក្រោម ហុចបង្គង់ឡើងទៅខាងលើ ។ បង្គង់ដែលភិក្ខុនៅខាងលើចាប់មិនជាប់ ក៏ធ្លាក់មកចំក្បាលភិក្ខុអ្នកនៅខាងក្រោម ។ ភិក្ខុនោះក៏ធ្វើកាលកិរិយាទៅ ។ ភិក្ខុអ្នកទម្លាក់នោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិទេ ព្រោះមិនបានក្លែង ។ សម័យនោះឯង ពួកភិក្ខុនៅដែនអាឡវី (នាំគ្នា) ធ្វើនវកម្ម ។ មានភិក្ខុមួយរូបនៅខាងក្រោម ហុចបង្គង់ទៅខាងលើ ។ ភិក្ខុនៅខាងលើមានចំណង់ចង់សម្លាប់ (ភិក្ខុនៅខាងក្រោម) ទើបទម្លាក់បង្គង់មកចំក្បាលភិក្ខុនៅខាងក្រោម ។ ភិក្ខុនោះធ្វើកាលកិរិយាទៅ ។ បេ ។ ភិក្ខុនោះមិនបានធ្វើកាលកិរិយា ។ ភិក្ខុអ្នកទម្លាក់បង្គង់នោះមានសេចក្តីសង្ស័យ

។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អាឡវិកា ភិក្ខូ នវកម្មំ ករោន្តា អដ្ដកំ ពន្ធន្តិ ។ អញ្ញតរោ ភិក្ខុ អញ្ញតរំ ភិក្ខុំ ឯតទវោច អាវុសោ អត្រ ឋិតោ ពន្ធាហីតិ ។ សោ តត្រ ឋិតោ ពន្ធន្តោ បរិបតិត្វា កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ កឹចិត្តោ ត្វំ ភិក្ខូតិ ។ នាហំ ភគវា មរណាធិប្បាយោតិ ។ អនាបត្តិ ភិក្ខុ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អាឡវិកា ភិក្ខូ នវកម្មំ ករោន្តា អដ្ដកំ ពន្ធន្តិ ។ អញ្ញតរោ ភិក្ខុ មរណាធិប្បាយោ អញ្ញតរំ ភិក្ខុំ ឯតទវោច អាវុសោ អត្រ ឋិតោ ពន្ធាហីតិ ។ សោ តត្រ ឋិតោ ពន្ធន្តោ បរិបតិត្វា កាលមកាសិ ។ បេ ។ បរិបតិត្វា ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។



។ បេ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង ពួកភិក្ខុនៅស្រុកអាឡវី (នាំគ្នា) ធ្វើនវកម្មចងរន្ទា ។ មានភិក្ខុមួយរូបបាននិយាយនឹងភិក្ខុមួយរូបទៀតថា ម្នាលអាវុសោ លោកចូរឈរត្រង់ទីនោះហើយចងរន្ទាទៅ ។ ភិក្ខុនោះឈរនៅត្រង់ទីនោះចងរន្ទា ក៏ភ្លាត់ធ្លាក់មកហើយធ្វើកាលកិរិយាទៅ ។ ភិក្ខុអ្នកបង្គាប់នោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្ដេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមិនមានចំណង់នឹងសម្លាប់ទេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ (បើ) មិនមានចំណង់នឹងសម្លាប់ មិនត្រូវអាបត្តិទេ ។ សម័យនោះឯង ពួកភិក្ខុនៅដែនអាឡវីកាលធ្វើនវកម្ម (បាននាំគ្នា) ចងរន្ទា ។ មានភិក្ខុមួយរូបមានចំណង់នឹងសម្លាប់ ទើបនិយាយនឹងភិក្ខុមួយរូបថា ម្នាលអាវុសោ លោកចូរឈរនៅទីនោះចងរន្ទាទៅ ។ ភិក្ខុនោះឈរនៅទីនោះកំពុងតែចងរន្ទា ក៏ភ្លាត់ធ្លាក់ចុះមកធ្វើមរណកាលទៅ ។ បេ ។ (មានភិក្ខុមួយរូបទៀត) ភ្លាត់ធ្លាក់ដែរ តែមិនបានធ្វើមរណកាលទេ ។ លោកដែលបង្គាប់នោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែអាបត្តិថុល្លច្ច័យ ។

(២១២) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ វិហារំ ឆាទេន្តោ ឱតរតិ ។ អញ្ញតរោ ភិក្ខុ តំ ភិក្ខុំ ឯតទវោច អាវុសោ ឥតោ ឱតរាហីតិ ។ សោ តេន ឱតរន្តោ បរិបតិត្វា កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ នមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ វិហារំ ឆាទេន្តោ ឱតរតិ ។ អញ្ញ-តរោ ភិក្ខុ មរណាធិប្បាយោ តំ ភិក្ខុំ ឯតទវោច អាវុសោ ឥតោ ឱតរាហីតិ ។ សោ តេន ឱតរន្តោ បរិបតិត្វា កាលមកាសិ ។ បេ ។ បរិបតិត្វា ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។

(២១៣) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អនភិរតិយា បីឡិតោ គិជ្ឈកូដំ អភិរុហិត្វា បបាតេ បបតន្តោ អញ្ញតរំ វិលីវការំ ឱត្ថរិត្វា មារេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស ន ច ភិក្ខវេ



(២១២) សម័យនោះឯង មានភិក្ខុមួយរូបប្រក់វិហារហើយចុះមក ។ មានភិក្ខុមួយរូបទៀតបាននិយាយនឹងភិក្ខុនោះថា ម្នាលអាវុសោ លោកចូរចុះខាងនេះ ។ ភិក្ខុនោះកាលចុះមកតាមផ្លូវនោះក៏ធ្លាក់ធ្វើមរណកាលទៅ ។ ភិក្ខុអ្នកបង្គាប់នោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អាបត្តិមិនមានដល់អ្នកដែលមិនមានចំណងនឹងឲ្យស្លាប់ទេ ។ សម័យនោះឯង មានភិក្ខុមួយរូបប្រក់វិហារហើយចុះមក ។ មានភិក្ខុមួយរូបទៀតមានចំណងនឹងឲ្យស្លាប់ ទើបនិយាយនឹងភិក្ខុនោះថា ម្នាលអាវុសោ លោកចូរចុះខាងនេះ ។ ភិក្ខុនោះកាលចុះតាមផ្លូវនោះមក ក៏ធ្លាក់ធ្វើមរណកាលទៅ ។ បេ ។ (មានភិក្ខុមួយរូបទៀត) ធ្លាក់ចុះហើយ តែមិនបានធ្វើមរណកាល ។ ភិក្ខុអ្នកបង្គាប់នោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។

(២១៣) សម័យនោះឯង មានភិក្ខុមួយរូបមានសេចក្តីអផ្សុកមកបៀតបៀន ទើបទៅកាន់ភ្នំគិជ្ឈកូដ ក៏ទម្លាក់ខ្លួនចុះមកត្រូវព្រោះសង្កត់លើជាងត្បាញផែនម្នាក់ស្លាប់ទៅ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ម្នាលភិក្ខុទាំងឡាយ

អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរស្ស ភិក្ខុនោ សីសាភិតាបោ ហោតិ ។ តស្ស ភិក្ខូ នត្ថុំ អទំសុ ។ សោ ភិក្ខុ កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរស្ស ភិក្ខុនោ សីសាភិតាបោ ហោតិ ។ តស្ស ភិក្ខូ មរណាធិប្បាយា នត្ថុំ អទំសុ ។ សោ ភិក្ខុ កាលមកាសិ ។ បេ ។ សោ ភិក្ខុ ន កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ សម្បាហេសុំ ។ សោ ភិក្ខុ កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ



។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង មានភិក្ខុមួយរូបកើតរោគក្តៅក្បាល ។ ទើបភិក្ខុទាំងឡាយឲ្យភិក្ខុនោះនត្ថុំ ។ ភិក្ខុនោះធ្វើមរណកាលទៅ ។ ពួកភិក្ខុទាំងនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ (បើ) មិនមានបំណងនឹងសម្លាប់ មិនត្រូវអាបត្តិទេ ។ សម័យនោះឯង មានភិក្ខុមួយរូបមានរោគក្តៅក្បាល ។ ភិក្ខុទាំងឡាយមានបំណងនឹងសម្លាប់ ទើបឲ្យភិក្ខុនោះនត្ថុំ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ បេ ។ ភិក្ខុនោះមិនបានធ្វើមរណកាល ។ ពួកភិក្ខុទាំងនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ មិនត្រូវអាបត្តិបារាជិកទេ ត្រូវត្រឹមតែអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយនាំគ្នាច្របាច់ភិក្ខុនោះ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ ពួកភិក្ខុទាំងនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ (បើ) មិនមានបំណងនឹងសម្លាប់ មិនត្រូវអាបត្តិទេ ។ សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំង

ឧមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ មរណាធិប្បាយា តេលេន អព្ភញ្ជឹសុ ។ សោ ភិក្ខុ កាលមកាសិ ។ បេ ។ សោ ភិក្ខុ ន កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ ឧដ្ឋាបេសុំ ។ សោ ភិក្ខុ កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ ឧមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ មរណាធិប្បាយា ឧដ្ឋាបេសុំ ។ សោ ភិក្ខុ កាលមកាសិ ។ បេ ។ សោ ភិក្ខុ ន កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ និបាតេសុំ ។



សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយមានបំណងនឹងសម្លាប់ ទើប (នាំគ្នា) យកប្រេងមកលាបភិក្ខុនោះ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ បេ ។ ភិក្ខុនោះមិនបានធ្វើមរណកាល ។ ពួកភិក្ខុទាំងនោះក៏មានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ មិនត្រូវអាបត្តិបារាជិកទេ ត្រូវត្រឹមតែអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ទើបភិក្ខុទាំងឡាយឲ្យភិក្ខុនោះក្រោកឡើង ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ ពួកភិក្ខុទាំងនោះក៏មានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ (បើ) មិនមានបំណងនឹងសម្លាប់ ឥតមានអាបត្តិទេ ។ សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយមានបំណងនឹងសម្លាប់ ទើបញុំាងភិក្ខុនោះឲ្យស្ទុះក្រោកឡើង ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ បេ ។ ភិក្ខុនោះមិនបានធ្វើមរណកាល ។ ពួកភិក្ខុទាំងនោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ មិនត្រូវអាបត្តិបារាជិកទេ ត្រូវត្រឹមតែអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំង

សោ ភិក្ខុ កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ មរណាធិប្បាយា និបាតេសុំ ។ សោ ភិក្ខុ កាលមកាសិ ។ បេ ។ សោ ភិក្ខុ ន កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តស្ស ភិក្ខូ អន្នំ អទំសុ ។ សោ ភិក្ខុ កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តស្ស ភិក្ខូ មរណាធិប្បាយា អន្នំ អទំសុ ។ សោ ភិក្ខុ កាលមកាសិ ។ បេ ។ សោ ភិក្ខុ ន កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។



ឡាយចាប់ភិក្ខុនោះផ្តួល ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ ពួកភិក្ខុទាំងនោះក៏មានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ (បើ) មិនមានបំណងនឹងសម្លាប់ ឥតមានអាបត្តិទេ ។ សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយមានបំណងនឹងសម្លាប់ ទើប (នាំគ្នា) ផ្តួលភិក្ខុនោះ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ បេ ។ ភិក្ខុនោះមិនបានធ្វើមរណកាល ។ ពួកភិក្ខុទាំងនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ មិនត្រូវអាបត្តិបារាជិកទេ ត្រូវត្រឹមតែអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយបានឲ្យបាយដល់ភិក្ខុនោះ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ ពួកភិក្ខុទាំងនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ (បើ) មិនមានបំណងនឹងសម្លាប់ មិនត្រូវអាបត្តិទេ ។ សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយមានបំណងនឹងសម្លាប់ បានឲ្យបាយដល់ភិក្ខុនោះ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ បេ ។ ភិក្ខុនោះមិនបានធ្វើមរណកាល ។ ពួកភិក្ខុទាំងនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ មិនត្រូវអាបត្តិបារាជិកទេ ត្រូវត្រឹមតែអាបត្តិថុល្លច្ច័យ ។

តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តស្ស ភិក្ខូ បានំ អទំសុ ។ សោ ភិក្ខុ កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តស្ស ភិក្ខូ មរណាធិប្បាយា បានំ អទំសុ ។ សោ ភិក្ខុ កាលមកាសិ ។ បេ ។ សោ ភិក្ខុ ន កាលមកាសិ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។

(២១៨) តេន ខោ បន សមយេន អញ្ញតរា ឥត្ថី បវុត្ថបតិកា ជារេន គព្ភិនី ហោតិ ។ សា កុលូបកំ ភិក្ខុំ ឯតទវោច ឥង្ឃាយ្យ គព្ភបាតនំ ជានាហីតិ ។ សុដ្ឋុ ភគិនីតិ តស្សា គព្ភបាតនំ អទាសិ ។ ទារកោ កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។



សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយបានឲ្យទឹកសម្រាប់ផឹកដល់ភិក្ខុនោះ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ ពួកភិក្ខុទាំងនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អាបត្តិមិនមានដល់ភិក្ខុដែលមិនមានបំណងនឹងសម្លាប់ទេ ។ សម័យនោះឯង មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយមានបំណងនឹងសម្លាប់ ទើបឲ្យទឹកសម្រាប់ផឹកដល់ភិក្ខុនោះ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ បេ ។ ភិក្ខុនោះមិនបានធ្វើមរណកាល ។ ពួកភិក្ខុទាំងនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ មិនត្រូវអាបត្តិបារាជិកទេ ត្រូវត្រឹមតែអាបត្តិថុល្លច្ច័យ ។

(២១៨) សម័យនោះឯង មានស្រីម្នាក់ ព្រាត់ប្រាសចាកប្តីមកយូរហើយ ទើបមានគភ៌នឹងសហាយ ។ ស្រីនោះបាននិយាយនឹងភិក្ខុជាកុលូបក[១] សូមមានមេត្តាចុះលោកម្ចាស់ សូមបានប្រាប់ថ្នាំរំលូតគភ៌ (ឲ្យខ្ញុំករុណា) ។ ភិក្ខុនោះទទួលថា ស្រួលហើយប្អូនស្រី ហើយក៏បានឲ្យថ្នាំរំលូតគភ៌ដល់ស្រីនោះ ។ ទារក (ដែលនៅក្នុងគភ៌) ក៏ធ្វើមរណកាលទៅ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា

---

១ ភិក្ខុអ្នកចូលទៅកាន់ត្រកូល គឺភិក្ខុដែលជិតដិតស្និទ្ធស្នាលនឹងត្រកូល ។

អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរស្ស បុរិសស្ស ទ្វេ បជាបតិយោ ហោន្តិ ឯកា វញ្ឈា(១) ឯកា វិជាយិនី ។ វញ្ឈា ឥត្ថី កុលូបកំ ភិក្ខុំ ឯតទវោច សចេ សា ភន្តេ វិជាយិស្សតិ សព្វស្ស កុដុម្ពស្ស ឥស្សរា ភវិស្សតិ ឥង្ឃយ្យ តស្សា គព្ភបាតនំ ជានាហីតិ ។ សុដ្ឋុ ភគិនីតិ តស្សា គព្ភបាតនំ អទាសិ ។ ទារកោ កាលមកាសិ ។ មាតា ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរស្ស បុរិសស្ស ទ្វេ បជាបតិយោ ហោន្តិ ឯកា វញ្ឈា ឯកា វិជាយិនី ។ វញ្ឈា ឥត្ថី កុលូបកំ ភិក្ខុំ ឯតទវោច សចេ សា ភន្តេ វិជាយិស្សតិ សព្វស្ស កុដុម្ពស្ស ឥស្សរា ភវិស្សតិ ឥង្ឃយ្យ តស្សា គព្ភបាតនំ ជានាហីតិ ។ សុដ្ឋុ ភគិនីតិ តស្សា គព្ភបាតនំ អទាសិ ។ មាតា កាលមកាសិ ។ ទារកោ ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស

១ វញ្ឈាតិបិ ជាហោ គព្ភិ ហេដ្ឋា ទិស្សតិ ន សោ បតិត សរេចិ ។



ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានបុរសម្នាក់មានប្រពន្ធពីរ (តែ) ប្រពន្ធម្នាក់នោះជាស្រីអារ ម្នាក់ទៀតជាស្រីមានកូន ។ ស្រីអារនិយាយនឹងភិក្ខុជាជីតូនជា បពិត្រលោកម្ចាស់ បើស្រីនោះសម្រាលកូន មុខតែនឹងបានជាធំលើទ្រព្យសម្បត្តិទាំងអស់ សូមបានមេត្តាចុះលោកម្ចាស់ សូមបានប្រាប់ថ្នាំរំលូតគភ៌ចេញ ។ ភិក្ខុទទួលថា ស្រួលហើយ ប្អូនស្រី (ថាហើយ) ក៏បានឲ្យថ្នាំរំលូតគភ៌ដល់ស្រីនោះ ។ ទារក (ដែលនៅក្នុងគភ៌) ក៏ធ្វើមរណកាលទៅ ។ ឯម្ដាយមិនបានធ្វើមរណកាលទេ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានបុរសម្នាក់មានប្រពន្ធពីរ ប្រពន្ធម្នាក់ជាស្រីអារ ម្នាក់ជាស្រីមានកូន ។ ឯស្រីអារនិយាយនឹងភិក្ខុជាជីតូនជា បពិត្រលោកម្ចាស់ បើស្រីនោះសម្រាលកូន គេនឹងបានជាធំលើទ្រព្យសម្បត្តិទាំងអស់ សូមមានមេត្តាចុះ លោកម្ចាស់ សូមបានប្រាប់ថ្នាំរំលូតគភ៌ចេញ ។ ភិក្ខុជាជីតូនទទួលថា ស្រួលហើយ ប្អូនស្រី (ថាហើយ) ក៏បានឲ្យថ្នាំរំលូតគភ៌ដល់ស្រីនោះ ។ ម្ដាយក៏ធ្វើមរណកាលទៅ ។ ឯទារកមិនធ្វើមរណកាលទេ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ

តេនហិ ភគិនិ តាបេហីតិ ។ សា តាបេត្វា គព្ភំ បាតេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។ តេន ខោ បន សមយេន អញ្ញតរា វញ្ឈា ឥត្ថី កុលុបកំ ភិក្ខុំ ឯតទវោច ឥង្ឃ ភេសជ្ជំ ជានាហិ យេនាហំ វិជាយេយ្យន្តិ ។ សុដ្ឋុ ភគិនីតិ តស្សា ភេសជ្ជំ អទាសិ ។ សា កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរា វិជាយិនី ឥត្ថី កុលុបកំ ភិក្ខុំ ឯតទវោច ឥង្ឃ ភេសជ្ជំ ជានាហិ យេនាហំ ន វិជាយេយ្យន្តិ ។ សុដ្ឋុ ភគិនីតិ តស្សា ភេសជ្ជំ អទាសិ ។ សា កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។



ក្រុណា) ភិក្ខុនោះប្រាប់ថា នែប្អូនស្រី បើដូច្នោះ នាងចូរកំដៅផ្ទៃនោះទៅ ។ នាងនោះក៏កំដៅផ្ទៃរលូតកូនមក ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានស្រីអារម្នាក់បាននិយាយនឹងកុលូបកភិក្ខុ ជា (ជំនិត) ថា សូមមានមេត្តាចុះ លោកម្ចាស់ ខ្ញុំគប្បីសម្រាលកូនដោយថ្នាំណា (ស្រួល) មេត្តាប្រាប់ថ្នាំនោះ (ដល់ខ្ញុំ) ។ ភិក្ខុនោះទទួលថា ស្រួលហើយ ប្អូនស្រី (ចាំហើយ) ក៏បានឲ្យថ្នាំដល់នាងនោះ ។ នាងនោះក៏ធ្វើមរណកាលទៅ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវត្រឹមតែអាបត្តិទុក្កដ ។ សម័យនោះឯង មានស្រីម្នាក់ជាស្រីមានកូន បាននិយាយនឹងភិក្ខុជាជំនិតថា សូមមានមេត្តាចុះ លោកម្ចាស់ ខ្ញុំមិនសម្រាលកូនដោយថ្នាំណា សូមលោកម្ចាស់ឲ្យថ្នាំនោះ (ដល់ខ្ញុំ) ។ លោកនោះទទួលថា ស្រួលហើយ ប្អូនស្រី (ចាំហើយ) ក៏បានឲ្យថ្នាំដល់ស្រីនោះ ។ នាងនោះក៏ធ្វើមរណកាលទៅ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវត្រឹមតែអាបត្តិទុក្កដ ។

តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ ន-
មរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន
អញ្ញតរោ ភិក្ខុ មរណាធិប្បាយោ អញ្ញតរំ ភិក្ខុំ វាឡ-
យក្ខំ វិហារំ បាហេសិ ។ តំ យក្ខា ជីវិតា វោរោបេសុំ
។ បេ ។ តំ យក្ខា ន ជីវិតា វោរោបេសុំ ។ តស្ស
កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារា-
ជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ
បន សមយេន អញ្ញតរោ ភិក្ខុ អញ្ញតរំ ភិក្ខុំ
វាឡកន្តារំ បាហេសិ ។ តំ វាឡា ជីវិតា វោរោ-
បេសុំ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ
ភិក្ខុ ន មរណាធិប្បាយស្សាតិ ។ តេន ខោ បន
សមយេន អញ្ញតរោ ភិក្ខុ មរណាធិប្បាយោ អញ្ញ-
តរំ ភិក្ខុំ វាឡកន្តារំ បាហេសិ ។ តំ វាឡា
ជីវិតា វោរោបេសុំ ។ បេ ។ តំ វាឡា ជីវិតា ន
វោរោបេសុំ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។
អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ច-
យស្សាតិ ។ តេន ខោ បន សមយេន



បង់ជីវិតភិក្ខុនោះទៅ ។ ឯភិក្ខុដែលជាអ្នកបញ្ជូនក៏កើតសេចក្តីសង្ស័យ
។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនមានអាបត្តិដល់ភិក្ខុដែលមិនមាន
បំណងនឹងសម្លាប់ទេ ។ សម័យនោះឯង ភិក្ខុមួយរូបមានបំណងនឹងសម្លាប់
ក៏បញ្ជូនភិក្ខុមួយរូបទៅកាន់វិហារដែលមានយក្ខកាច ។ ពួកយក្ខក៏ផ្តាច់បង់
ជីវិតភិក្ខុនោះទៅ ។ បេ ។ ពួកយក្ខមិនបានផ្តាច់បង់ជីវិតភិក្ខុនោះទេ ។
ឯភិក្ខុជាអ្នកបញ្ជូននោះក៏មានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា
ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។ សម័យ
នោះឯង ភិក្ខុមួយរូប បញ្ជូនភិក្ខុមួយរូបទៅកាន់ផ្លូវលំបាកមានសត្វសា-
ហាវ ។ សត្វសាហាវទាំងឡាយក៏ផ្តាច់បង់ជីវិតភិក្ខុនោះទៅ ។ ភិក្ខុអ្នក
បញ្ជូនមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនមាន
អាបត្តិដល់ភិក្ខុដែលមិនមានបំណងនឹងសម្លាប់ទេ ។ សម័យនោះឯង ភិក្ខុ
មួយរូបមានបំណងនឹងសម្លាប់ បានបញ្ជូនភិក្ខុមួយរូបទៅកាន់ផ្លូវឆ្ងាយដាច់
ស្រយាលមានសត្វសាហាវ ។ សត្វសាហាវទាំងឡាយក៏ផ្តាច់បង់ជីវិត
ភិក្ខុនោះទៅ ។ បេ ។ ពួកសត្វសាហាវមិនបានផ្តាច់ជីវិតភិក្ខុនោះទេ ។
ភិក្ខុអ្នកបញ្ជូននោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ
មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង

អញ្ញតរោ ភិក្ខុ អញ្ញតរំ ភិក្ខុំ ចោរកន្តារំ បាហេសិ ។ តំ ចោរា ជីវិតា វោរោបេសុំ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ មរណាធិប្បាយោ អញ្ញតរំ ភិក្ខុំ ចោរកន្តារំ បាហេសិ ។ តំ ចោរា ជីវិតា វោរោបេសុំ ។ បេ ។ តំ ចោរា ន ជីវិតា វោរោបេសុំ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។

(៦៦០) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ តំ មញ្ញមានោ តំ ជីវិតា វោរោបេសិ ។ តំ មញ្ញមានោ អញ្ញំ ជីវិតា វោរោបេសិ ។ អញ្ញំ មញ្ញមានោ តំ ជីវិតា វោរោបេសិ ។ អញ្ញំ មញ្ញមានោ អញ្ញំ ជីវិតា វោរោបេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តិ ត្វំ ភិក្ខុ បារាជិកស្សាតិ ។



មានភិក្ខុមួយរូប បានបញ្ជូនភិក្ខុមួយរូបទៅកាន់ផ្លូវឆ្ងាយដាច់ស្រយាល ជាទីចោរ (ការស្រែយាទៅ) ។ ពួកចោរក៏ផ្តាច់បង់ជីវិតភិក្ខុនោះទៅ ។ ភិក្ខុអ្នកបញ្ជូននោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ (បើ) មិនមានចំណងនឹងឲ្យស្លាប់ មិនត្រូវអាបត្តិទេ ។ សម័យនោះឯង ភិក្ខុមួយរូបមានចំណងនឹងឲ្យស្លាប់ ក៏បញ្ជូនភិក្ខុមួយរូបទៅកាន់ផ្លូវឆ្ងាយដាច់ស្រយាល ដែលមានចោរ (ការស្រែយាទៅ) ។ ពួកចោរក៏ផ្តាច់បង់ជីវិតភិក្ខុនោះទៅ ។ បេ ។ ពួកចោរមិនបានផ្តាច់បង់ជីវិតភិក្ខុនោះទេ ។ ភិក្ខុអ្នកបញ្ជូននោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។

(៦៦០) សម័យនោះឯង មានភិក្ខុមួយរូប ចំណាំភិក្ខុជាសត្រូវនោះបាន ហើយក៏ទៅផ្តាច់បង់ជីវិតភិក្ខុជាសត្រូវនោះទៅ ។ ចំណាំភិក្ខុជាសត្រូវនោះបាន តែទៅផ្តាច់បង់ជីវិតភិក្ខុដទៃវិញ ។ ចូលចិត្តថាជាភិក្ខុដទៃ តែទៅផ្តាច់បង់ជីវិតភិក្ខុជាសត្រូវនោះវិញ ។ សំគាល់ថាជាភិក្ខុដទៃ ក៏ទៅផ្តាច់បង់ជីវិតភិក្ខុដទៃ (នោះ) ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៦៦១) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អមនុស្សេន គហិតោ ហោតិ ។ អញ្ញតរោ ភិក្ខុ តស្ស ភិក្ខុនោ បហារំ អទាសិ ។ សោ ភិក្ខុ កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អមនុស្សេន គហិតោ ហោតិ ។ អញ្ញតរោ ភិក្ខុ មរណាធិប្បាយោ តស្ស ភិក្ខុនោ បហារំ អទាសិ ។ សោ ភិក្ខុ កាលមកាសិ ។ បេ ។ សោ ភិក្ខុ ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។

(៦៦២) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ កល្យាណកម្មស្ស សគ្គកថំ កថេសិ ។ សោ អធិមុត្តោ កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ



(៦៦១) សម័យនោះឯង មានភិក្ខុមួយរូបខ្មោចចូល ។ មានភិក្ខុមួយរូបទៀតបានវាយភិក្ខុនោះ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ ភិក្ខុដែលវាយនោះក៏មានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ (បើ) មិនមានចំណងនឹងសម្លាប់ មិនត្រូវអាបត្តិទេ ។ សម័យនោះឯង មានភិក្ខុមួយរូបខ្មោចចូលដែរ ។ មានភិក្ខុមួយរូបទៀតមានចំណងនឹងសម្លាប់ បានវាយភិក្ខុនោះ ។ ភិក្ខុនោះក៏ធ្វើមរណកាលទៅ ។ បេ ។ ភិក្ខុនោះមិនបានធ្វើមរណកាល ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិថុល្លច្ច័យ ។

(៦៦២) សម័យនោះឯង មានភិក្ខុមួយរូបពោលសគ្គកថា (ថ្លែងអំពីស្ថានសួគ៌) ដល់បុគ្គលដែលបានធ្វើអំពើល្អ ។ បុគ្គលដែលបានស្ដាប់នោះ ក៏អត់ដង្ហើមធ្វើមរណកាលទៅ ។ ភិក្ខុអ្នកសំដែងមានសេចក្ដីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ ភិក្ខុដែលមិនមានចំណងនឹងសម្លាប់ មិនត្រូវអាបត្តិទេ ។ សម័យនោះឯង មានភិក្ខុមួយរូបមានចំណងនឹង

មរណាធិប្បាយោ កល្យាណកម្មស្ស សគ្គកថំ កថេសិ ។ សោ អធិមុត្តោ កាលមកាសិ ។ បេ ។ សោ អធិមុត្តោ ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ នេរយិកស្ស និរយកថំ កថេសិ ។ សោ ឧត្តសិត្វា កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ ន មរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ មរណាធិប្បាយោ នេរយិកស្ស និរយកថំ កថេសិ ។ សោ ឧត្តសិត្វា កាលមកាសិ ។ បេ ។ សោ ឧត្តសិត្វា ន កាលមកាសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។

(២២៣) តេន ខោ បន សមយេន អាឡវកា ភិក្ខូ នវកម្មំ ករោន្តា រុក្ខំ ឆិន្ទន្តិ ។ អញ្ញតរោ ភិក្ខុ អញ្ញតរំ ភិក្ខុំ ឯតទវោច



ឲ្យស្លាប់ ហើយសំដែងសគ្គកថា របស់បុគ្គលដែលបានធ្វើអំពើល្អមកហើយ ។ បុគ្គលនោះក៏ចិត្តជ្រើមជ្រែមធ្វើមរណកាលទៅ ។ បេ ។ បុគ្គលនោះបានអស់ជ្រើមដែរ តែមិនបានធ្វើមរណកាលទេ ។ ឯភិក្ខុអ្នកសំដែងមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។ សម័យនោះឯង មានភិក្ខុមួយរូបសំដែងនិរយកថា (ដំណាលអំពីនរក) ដល់សត្វដែលទៅកើតក្នុងនរក ។ ភិក្ខុអ្នកស្តាប់នោះតក់ស្លុត ហើយធ្វើមរណកាលទៅ ។ ភិក្ខុអ្នកសំដែងនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកដែលមិនមានប្រាថ្នាឲ្យស្លាប់ មិនត្រូវអាបត្តិទេ ។ សម័យនោះឯង មានភិក្ខុមួយរូបមានប្រាថ្នាឲ្យស្លាប់ ហើយពោលនិរយកថាដល់សត្វដែលទៅកើតក្នុងនរក ។ បុគ្គលនោះតក់ស្លុតហើយធ្វើមរណកាលទៅ ។ បេ ។ បុគ្គលនោះតក់ស្លុត តែមិនបានធ្វើមរណកាលឡើយ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។

(២២៣) សម័យនោះឯង ពួកភិក្ខុនៅក្រុងអាឡវី កាលធ្វើនវកម្ម រៀបចំកាប់ដើមឈើ ។ មានភិក្ខុមួយរូបបាននិយាយនឹងភិក្ខុមួយរូប

អាវុសោ ឯត្ថ ឋិតោ ឆិន្ទាហីតិ ។ តំ ឯត្ថ ឋិតំ ឆិន្ទន្តំ រុក្ខោ ឱត្ថរិត្វា មារេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អមរណាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អាឡវកា ភិក្ខូ នវកម្មំ ករោន្តា រុក្ខំ ឆិន្ទន្តិ ។ អញ្ញតរោ ភិក្ខុ មរណាធិប្បាយោ អញ្ញតរំ ភិក្ខុំ ឯតទវោច អាវុសោ ឯត្ថ ឋិតោ ឆិន្ទាហីតិ ។ តំ ឯត្ថ ឋិតំ ឆិន្ទន្តំ រុក្ខោ ឱត្ថរិត្វា មារេសិ ។ បេ ។ រុក្ខោ ឱត្ថរិត្វា ន មារេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។

(៤៦៤) តេន ខោ បន សមយេន ឆព្វគ្គិយា ភិក្ខូ ទាយំ អាលិម្បេសុំ ។ មនុស្សា ទឌ្ឍា កាលមកំសុ ។ តេសំ កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ អមរណាធិប្បាយានន្តិ ។ តេន ខោ បន សមយេន ឆព្វគ្គិយា ភិក្ខូ មរណាធិប្បាយា ទាយំ អាលិម្បេសុំ ។ មនុស្សា ទឌ្ឍា កាលមកំសុ ។ បេ ។



ទៀតថា ម្នាលអាវុសោ លោកចូរឈរត្រង់ទីនេះកាប់ឈើទៅ ។ ដើមឈើក៏រលំសង្កត់ភិក្ខុនោះដែលកំពុងឈរកាប់ស្លាប់ត្រង់ទីនោះទៅ ។ ភិក្ខុអ្នកបង្គាប់នោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ ភិក្ខុដែលមិនប្រាថ្នានឹងសម្លាប់មិនត្រូវអាបត្តិទេ ។ សម័យនោះឯង ពួកភិក្ខុនៅស្រុកអាឡវី កាលនឹងធ្វើនវកម្មក៏នាំគ្នាកាប់ដើមឈើ ។ មានភិក្ខុមួយរូបមានបំណងនឹងសម្លាប់ ហើយនិយាយនឹងភិក្ខុមួយរូបទៀតថា ម្នាលអាវុសោ លោកចូរឈរត្រង់ទីនេះកាប់ឈើទៅ ។ ដើមឈើក៏រលំសង្កត់ភិក្ខុនោះដែលកំពុងឈរកាប់ស្លាប់ត្រង់ទីនោះទៅ ។ បេ ។ ដើមឈើរលំសង្កត់មិនស្លាប់ ។ ភិក្ខុអ្នកបង្គាប់នោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។

(៤៦៤) សម័យនោះឯង ឆព្វគ្គិយភិក្ខុទាំងឡាយនាំគ្នាដុតភ្លើងព្រៃ ។ មនុស្ស (ដែលនៅក្នុងព្រៃ) ត្រូវភ្លើងឆេះស្លាប់ (ជាច្រើននាក់) ។ ភិក្ខុទាំងនោះក៏មានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ ភិក្ខុដែលមិនមានបំណងនឹងសម្លាប់ មិនត្រូវអាបត្តិទេ ។ សម័យនោះឯង ពួកឆព្វគ្គិយភិក្ខុមានបំណងនឹងសម្លាប់ក៏នាំគ្នាដុតភ្លើងព្រៃ ។ មនុស្សទាំងឡាយត្រូវភ្លើងព្រៃឆេះស្លាប់ (ជាច្រើននាក់) ។ បេ ។

មនុស្សា តេន ន កាលមកំសុ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខវេ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។

(៦៦៥) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អាឃាតនំ គន្ត្វា ចោរឃាតកំ ឯតទវោច មាវុសោ ឥមំ កិលមេសិ ឯកេន បហារេន ជីវិតា វោរោបេហីតិ ។ សុដ្ឋុ ភន្តេតិ ឯកេន បហារេន ជីវិតា វោរោបេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អាបត្តិ ត្វំ ភិក្ខុ បារាជិកំ អាបន្នោតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អាឃាតនំ គន្ត្វា ចោរឃាតកំ ឯតទវោច មាវុសោ ឥមំ កិលមេសិ ឯកេន បហារេន ជីវិតា វោរោបេហីតិ ។ សោ នាហំ តុយ្ហំ វចនំ ករិស្សាមីតិ តំ ជីវិតា វោរោបេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។

(៦៦៦) តេន ខោ បន សមយេន អញ្ញតរោ បុរិសោ ញាតិឃរេ[1] ហត្ថបាទច្ឆិន្នោ ញាតកេហិ

១ ម. ញាតិឃរេ ។



ពួកមនុស្សត្រូវភ្លើងនោះ តែមិនស្លាប់ ។ ភិក្ខុនោះក៏មានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ ភិក្ខុនោះមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិថុល្លច្ច័យ ។

(៦៦៥) សម័យនោះឯង មានភិក្ខុមួយរូបដើរទៅកាន់ទីសម្លាប់ចោរ ហើយពោលនឹងពេជ្ឈឃាតថា ម្នាលអាវុសោ អ្នកកុំធ្វើឲ្យបុរសនេះលំបាកឡើយ អ្នកចូរផ្តាច់បង់ជីវិតដោយប្រហារត្រឹមតែមួយទៅ ។ ពេជ្ឈឃាតទទួលពាក្យថា ស្រួលហើយ លោកម្ចាស់ (ថាហើយ) ក៏ផ្តាច់បង់ជីវិត (ចោរ) ដោយប្រហារតែត្រឹមមួយ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។ សម័យនោះឯង មានភិក្ខុមួយរូបដើរទៅកាន់ទីសម្លាប់ចោរ ហើយពោលនឹងពេជ្ឈឃាតថា ម្នាលអាវុសោ អ្នកកុំធ្វើបុរសនេះឲ្យលំបាកឡើយ ចូរអ្នកផ្តាច់បង់ជីវិតដោយប្រហារតែត្រឹមមួយទៅ ។ ពេជ្ឈឃាតឆ្លើយថា ខ្ញុំព្រះករុណាមិនធ្វើតាមពាក្យលោកទេ (ថាហើយ) ក៏ផ្តាច់បង់ជីវិតបុរសនោះទៅ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកមិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិទុក្កដ ។

(៦៦៦) សម័យនោះឯង មានបុរសម្នាក់គេកាត់ដៃកាត់ជើង (មកនៅ) ក្នុងផ្ទះត្រកូល មានពួកញាតិមកប្រជុំគ្នាក្បែរបុរស ។ មានភិក្ខុមួយរូប

# បារាជិកកណ្ឌេ ចតុត្ថសិក្ខាបទំ

(៦៦៧) តេន សមយេន ពុទ្ធោ ភគវា វេសាលិយំ វិហរតិ មហាវនេ កូដាគារសាលាយំ ។ តេន ខោ បន សមយេន សម្ពហុលា សន្ទិដ្ឋា សម្ភត្តា ភិក្ខូ វគ្គុមុទាយ នទិយា តីរេ វស្សំ ឧបគច្ឆិំសុ ។ តេន ខោ បន សមយេន វជ្ជី ទុព្ភិក្ខា ហោតិ ទ្វីហិតិកា សេតដ្ឋិកា សលាកាវុត្តា ន សុករា ឧញ្ឆេន បគ្គហេន យាបេតុំ ។ អថខោ តេសំ ភិក្ខូនំ ឯតទហោសិ ឯតរហិ ខោ វជ្ជី ទុព្ភិក្ខា ទ្វីហិតិកា សេតដ្ឋិកា សលាកាវុត្តា ន សុករា ឧញ្ឆេន បគ្គហេន យាបេតុំ កេន នុ ខោ មយំ ឧបាយេន

# បារាជិកកណ្ឌ សិក្ខាបទទី ៤

(៦៦៧) សម័យនោះ ព្រះសម្ពុទ្ធជាម្ចាស់ដ៏មានព្រះភាគទ្រង់គង់នៅក្នុងកូដាគារសាលាក្នុងព្រៃមហាវន ទៀបក្រុងវេសាលី ។ គ្រានោះ មានភិក្ខុច្រើនរូបជាមិត្រធ្លាប់ឃើញគ្នា និងមិត្រស្និទ្ធស្នាលនាំមុខ បាននៅចាំវស្សាក្បែរច្រាំងស្ទឹងវគ្គុមុទា ។ កាលនោះ ស្រុកវជ្ជីកើតទុរ្ភិក្សអត់បាយ មនុស្សទាំងឡាយចិញ្ចឹមជីវិតបានដោយកម្រក្រៃពេក មនុស្ស (ដែលក្រលំបាកស្រាប់ ក៏ដល់នូវសេចក្តីស្លាប់) មានឆ្អឹងស (ដេរដាសលើផែនដី) មនុស្ស (ដែលមានទ្រព្យសម្បត្តិល្មមចិញ្ចឹមជីវិតស្រួលអន្តរគេបាន) ក៏មិនងាយនឹងចិញ្ចឹមជីវិតដែរ លុះតែមានស្លាកកាន់ជាសំគាល់ ទើបចិញ្ចឹមជីវិតបាន មនុស្សទាំងឡាយក្នុងស្រុកនោះនឹងក្បាយាមស្វែងរកអាហារបានដោយកម្រក្រៃពេក ។ វេលានោះឯង ភិក្ខុទាំងនោះក៏គិតគ្នាថា ឥឡូវនេះ ស្រុកវជ្ជីកើតទុរ្ភិក្សអត់បាយ មនុស្សទាំងឡាយចិញ្ចឹមជីវិតបានដោយកម្រក្រៃពេក មនុស្ស (ដែលក្រលំបាកស្រាប់ ក៏ដល់នូវសេចក្តីស្លាប់) មានឆ្អឹងស (ដេរដាសលើផែនដី) មនុស្ស (ដែលមានទ្រព្យសម្បត្តិល្មមចិញ្ចឹមជីវិតស្រួលអន្តរគេបាន) ក៏មិនងាយនឹងចិញ្ចឹមជីវិតដែរ លុះតែមានស្លាកកាន់ជាសំគាល់ ទើបចិញ្ចឹមជីវិតបាន មនុស្សទាំងឡាយក្នុងស្រុកនោះនឹងក្បាយាមស្វែងរកអាហារបានដោយកម្រក្រៃពេក តើយើងនឹងគិតធ្វើឧបាយដូចម្តេច

សមគ្គា សម្មោទមានា អវិវទមានា ផាសុកំ វស្សំ វសេយ្យាម ន ច បិណ្ឌកេន កិលមេយ្យាមាតិ ។ ឯកច្ចេ ឯវមាហំសុ ហន្ទ មយំ អាវុសោ គិហីនំ កម្មន្តំ អធិដ្ឋេម ឯវំ តេ អម្ហាកំ ទាតុំ មញ្ញិស្សន្តិ ឯវំ មយំ សមគ្គា សម្មោទមានា អវិវទមានា ផាសុកំ វស្សំ វសិស្សាម ន ច បិណ្ឌកេន កិលមិស្សាមាតិ ។ ឯកច្ចេ ឯវមាហំសុ អលំ អាវុសោ កឹ គិហីនំ កម្មន្តំ អធិដ្ឋិតេន ហន្ទ មយំ អាវុសោ គិហីនំ ទូតេយ្យំ ហរាម ឯវំ តេ អម្ហាកំ ទាតុំ មញ្ញិស្សន្តិ ឯវំ មយំ សមគ្គា សម្មោទមានា អវិវទមានា ផាសុកំ វស្សំ-វសិស្សាម ន ច បិណ្ឌកេន កិល-មិស្សាមាតិ ។ ឯកច្ចេ ឯវមាហំសុ អលំ អាវុសោ កឹ គិហីនំ កម្មន្តំ អធិដ្ឋិតេន កឹ គិហីនំ ទូតេយ្យំ ហដេន[1] ហន្ទ មយំ អាវុសោ គិហីនំ អញ្ញមញ្ញស្ស ឧត្តរិមនុស្សធម្មស្ស វណ្ណំ ភាសិស្សាម អសុកោ

១ ហរណេនាតិបិ បាឋោ ។



ឲ្យបានសាមគ្គីស្មោះសរ កុំឲ្យមានវិវាទទាស់ទែងគ្នា នៅចាំវស្សាឲ្យបានស្រួលផង កុំឲ្យលំបាកដោយអាហារបិណ្ឌបាតផង ។ ភិក្ខុខ្លះនិយាយថា ម្នាលអាវុសោ បើដូច្នោះ យើងត្រូវទទួលកាន់នូវការងាររបស់ពួកគ្រហស្ថចុះ កាលបើយើងធ្វើយ៉ាងនេះហើយ ពួកគ្រហស្ថទាំងនោះ គង់នឹងនឹកនាំឲ្យអាហារដល់យើងមិនខាន កាលបើបានអាហារយ៉ាងនេះហើយ យើងក៏បានសាមគ្គីស្មោះសរមិនវិវាទទាស់ទែងគ្នា នៅចាំវស្សាក៏ស្រួលផង ហើយមិនលំបាកដោយអាហារបិណ្ឌបាតផង ។ ភិក្ខុខ្លះទៀតថា ម្នាលអាវុសោ កុំ ប្រយោជន៍អ្វីនឹងទទួលកាន់នូវការងាររបស់គ្រហស្ថ (នោះ) ម្នាលអាវុសោ ណ្ហើយចុះ យើងត្រូវធ្វើជាអ្នកនាំដំណឹងដល់ពួកគ្រហស្ថវិញ កាលបើយើងធ្វើយ៉ាងនេះហើយ ពួកជនទាំងនោះនឹងនឹកនាំឲ្យអាហារបិណ្ឌបាតដល់យើងមិនខាន កាលបើបានអាហារយ៉ាងនេះ យើងនឹងព្រមព្រៀងស្មោះសរមិនវិវាទទាស់ទែងគ្នា នៅចាំវស្សាក៏ស្រួលផង ហើយមិនលំបាកដោយអាហារបិណ្ឌបាតផង ។ ភិក្ខុខ្លះទៀតថា ម្នាលអាវុសោ កុំ ប្រយោជន៍អ្វីនឹងទទួលកាន់នូវការងាររបស់គ្រហស្ថ ប្រយោជន៍អ្វីនឹងធ្វើជាអ្នកនាំដំណឹងដល់ពួកគ្រ-ហស្ថ (នោះ) ម្នាលអាវុសោ ណ្ហើយចុះ យើងត្រូវតែពោលគុណឧត្តរិមនុស្ស-ធម្មគ្នាយើងទៅវិញទៅមក ឲ្យពួកគ្រហស្ថ (គេស្តាប់វិញ) ថាភិក្ខុឯណោះ

កាលំ វិទិត្វា ន បុច្ឆន្តិ អត្ថសញ្ហិតំ តថាគតា បុច្ឆន្តិ នោ អនត្ថសញ្ហិតំ អនត្ថសញ្ហិតេ សេតុឃាតោ តថាគតានំ ។ ទ្វីហាការេហិ ពុទ្ធា ភគវន្តោ ភិក្ខូ បដិបុច្ឆន្តិ ធម្មំ វា ទេសេស្សាម សាវកានំ វា សិក្ខាបទំ បញ្ញាបេស្សាមាតិ ។ អថខោ ភគវា វគ្គុមុទាតីរិយេ ភិក្ខូ ឯតទវោច យថា កថំ បន តុម្ហេ ភិក្ខវេ សមគ្គា សម្មោទមានា អវិវទមានា ផាសុកំ វស្សំ វសិត្ថ ន ច បិណ្ឌកេន កិលមិត្ថាតិ ។ អថខោ តេ ភិក្ខូ ភគវតោ ឯតមត្ថំ អារោចេសុំ ។ កច្ចិ បន វោ ភិក្ខវេ ភូតន្តិ ។ អភូតំ ភគវាតិ ។

(២៤៨) វិគរហិ ពុទ្ធោ ភគវា អននុច្ឆវិកំ មោឃបុរិសា អននុលោមិកំ អប្បដិរូបំ អស្សាមណកំ អកប្បិយំ



ទ្រង់ជ្រាបច្បាស់នូវកាលគួរហើយ មិនត្រាស់សួរក៏មាន ព្រះតថាគតទាំងឡាយទ្រង់សួរចំពោះតែអំពើដែលមានប្រយោជន៍ អំពើដែលមិនមានប្រយោជន៍ទ្រង់មិនសួរទេវិញ ព្រោះព្រះតថាគតទាំងឡាយទ្រង់ផ្តាច់បង់នូវអំពើដែលមិនមានប្រយោជន៍ដោយអរិយមគ្គអស់ហើយ ។ ព្រះសម្ពុទ្ធជាម្ចាស់ទាំងឡាយដ៏មានព្រះភាគ ទ្រង់សួរពួកភិក្ខុដោយហេតុពីរប្រការ គឺទ្រង់សួរដោយគិតថានឹងសំដែងធម៌ ១ ដើម្បីនឹងបញ្ញត្តសិក្ខាបទដល់ពួកសាវ័ក ១ ។ គ្រានោះ ព្រះដ៏មានព្រះភាគទ្រង់ត្រាស់សួរពួកភិក្ខុដែលនៅទៀបឆ្នេរស្ទឹងវគ្គុមុទាថា ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយបានជាមានសេចក្តីសាមគ្គីស្រុះស្រួលមិនវិវាទទាស់ទែងគ្នា នៅចាំវស្សាក៏ស្រួលបួល មិនលំបាកដោយអាហារបិណ្ឌបាត ដោយហេតុអ្វី ។ គ្រានោះ ភិក្ខុទាំងអម្បាលនោះ ក៏ក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ (ដោយសព្វគ្រប់) ។ ទើបព្រះអង្គត្រាស់សួរថា នែភិក្ខុទាំងឡាយ ហេតុនេះពិតមែនឬ ។ ភិក្ខុទាំងនោះក្រាបទូលតបវិញថា បពិត្រព្រះដ៏មានព្រះភាគ ហេតុនេះមិនពិតទេ ។

(២៤៨) ព្រះសម្ពុទ្ធជាម្ចាស់ដ៏មានព្រះភាគ ទ្រង់តិះដៀលថា នែមោឃបុរសទាំងឡាយ អំពើដែលអ្នកទាំងអស់គ្នាធ្វើនេះ មិនសមគួរ មិនត្រូវទំនង មិនត្រូវបែប មិនមែនជារបស់សមណ មិនគប្បី មិនគួរធ្វើសោះ

(៦៣០) បញ្ចិមេ ភិក្ខវេ មហាចោរា សន្តោ សំវិជ្ជមានា លោកស្មឹ ។ កតមេ បញ្ច ។ ឥធ ភិក្ខវេ ឯកច្ចស្ស មហាចោរស្ស ឯវំ ហោតិ កុទាស្សុ នាមាហំ សតេន វា សហស្សេន វា បរិវុតោ គាម-និគមរាជធានីសុ អាហិណ្ឌិស្សាមិ ហនន្តោ ឃាតេន្តោ ឆិន្ទន្តោ ឆេទាបេន្តោ បចន្តោ បាចេន្តោតិ ។ សោ អបរេន សមយេន សតេន វា សហស្សេន វា បរិវុតោ គាមនិគមរាជធានីសុ អាហិណ្ឌតិ ហនន្តោ ឃាតេន្តោ ឆិន្ទន្តោ ឆេទាបេន្តោ បចន្តោ បាចេន្តោ ។ ឯវមេវ ខោ ភិក្ខវេ ឥធេកច្ចស្ស បាបភិក្ខុនោ ឯវំ ហោតិ កុទាស្សុ នាមាហំ សតេន វា សហស្សេន វា បរិវុតោ គាមនិគមរាជធានីសុ ចារិកំ ចរិស្សាមិ សក្កតោ គរុកតោ មានិតោ បូជិតោ អបចិតោ គហដ្ឋានញ្ចេវ បព្ពជិតានញ្ច លាភី ចីវរបិណ្ឌបាតសេនាសនគិលានប្បច្ចយភេសជ្ជបរិក្ខារា-នន្តិ ។ សោ អបរេន សមយេន សតេន វា



[៦៣០] ម្នាលភិក្ខុទាំងឡាយ ក្នុងលោកនេះ មានភិក្ខុជាមហាចោរ ៥ ពួក ។ ម្នាលភិក្ខុទាំងឡាយ ភិក្ខុជាមហាចោរ ៥ ពួកនោះដូចម្តេចខ្លះ ។ ម្នាលភិក្ខុទាំងឡាយ សេចក្តីត្រិះរិះរបស់មហាចោរខ្លះដែលមានក្នុងលោកនេះថា បើដល់វេលាណាអញបានចោរសេន ១ រយ ឬ ១ ពាន់ចោមរោមជាគ្នាហើយ នឹងដើរចូលទៅក្នុងស្រុកនិគមរាជធានី ហើយនឹងកាប់សំលាប់ផ្តាច់ជីវិតពួកអ្នកស្រុកទាំងនោះ ដោយខ្លួនឯង ឬប្រើអ្នកដទៃឲ្យផ្តាច់ជីវិត ដុតរោលអ្នកស្រុកទាំងនោះ ដោយខ្លួនឯង ឬប្រើអ្នកដទៃឲ្យដុតរោល ។ លុះដល់សម័យខាងក្រោយមក មហាចោរនោះបានចោរសេន ១ រយ ឬ ១ ពាន់ ចោមរោមជាគ្នាហើយ ក៏ដើរចូលទៅក្នុងស្រុកនិគមរាជធានី កាប់សំលាប់ផ្តាច់ជីវិតអ្នកស្រុកទាំងនោះ ដោយខ្លួនឯង ឬប្រើអ្នកដទៃឲ្យផ្តាច់ជីវិត ដុតរោលអ្នកស្រុកទាំងនោះដោយខ្លួនឯង ឬប្រើអ្នកដទៃឲ្យដុតរោល យ៉ាងណាមិញ ។ ម្នាលភិក្ខុទាំងឡាយ សេចក្តីត្រិះរិះរបស់ភិក្ខុបាបខ្លះដែលមានក្នុងសាសនានេះ ក៏យ៉ាងនោះដែរ (ត្រិះរិះ) ថា បើដល់កាលណាអញបានបរិស័ទ ១ រយ ឬ ១ ពាន់ចោមរោមជាគ្នាហើយ នឹងត្រាច់ទៅកាន់ចារិកក្នុងស្រុកនិគមរាជធានី ក៏នឹងបានទទួលចីវរ បិណ្ឌបាត សេនាសនៈ និងគិលានប្បច្ច័យភេសជ្ជបរិក្ខារ ដែលពួកគ្រហស្ថ ពួកបព្វជិតធ្វើសក្ការៈគោរពរាប់អានបូជាកោតក្រែង ។ លុះដល់សម័យខាងក្រោយមក

អជានន្តោ អបស្សន្តោ អត្តនិ កុសលំ ធម្មំ អត្ថិ មេ កុសលា[1] ធម្មាតិ ។ ឧត្តរិមនុស្សធម្មោ នាម ឈានំ វិមោក្ខំ សមាធិំ សមាបត្តិំ ញាណទស្សនំ មគ្គភាវនា ផលសច្ឆិកិរិយា កិលេសប្បហានំ វិនីវរណតា ចិត្តស្ស សុញ្ញាគារេ អភិរតិ ។ អត្តុបនាយិកន្តិ តេ វា កុសលេ ធម្មេ អត្តនិ ឧបនេតិ អត្តានំ វា តេសុ កុសលេសុ ធម្មេសុ ឧបនេតិ ។ ញាណន្តិ តិស្សោ វិជ្ជា ។ ទស្សនន្តិ យំ ញាណំ តំ ទស្សនំ យំ ទស្សនំ តំ ញាណំ ។ សមុទាចរេយ្យាតិ អារោចេយ្យ ឥត្ថិយា វា បុរិសស្ស វា គហដ្ឋស្ស វា បព្ពជិតស្ស វា ។ ឥតិ ជានាមិ ឥតិ បស្សាមីតិ ជានាមហំ ឯតេ ធម្មេ

១ ទ្វីសុបិ ពោត្ថកេសុ កុសលោ ធម្មោតិ ឧតវគ្គនិទ្ទេសេ ភាសោ ។



នូវកុសលធម៌ដែលមិនមានមិនពិតមិនប្រាកដក្នុងខ្លួន ( ហើយយល់ចិត្តថា ) កុសលធម៌ទាំងឡាយរបស់អាត្មាមាន ។ ឈាន (គុណដុតកំដៅបច្ចនីកធម៌គឺកិលេស ) ១ វិមោក្ខ ( គុណធម៌ដែលផុតស្រឡះចាកកាមជាដើម ) ១ សមាធិ ( សភាពដែលដំកល់ចិត្តស្មើមាំល្អក្នុងអារម្មណ៍ ) ១ សមាបត្តិ ( គុណជាតដែលដល់ព្រម ) ១ ញាណទស្សនៈ ( កិរិយាឃើញដោយបញ្ញា ) ១ មគ្គភាវនា ( កិរិយាចំរើននូវមគ្គ ) ១ ផលសច្ឆិកិរិយា ( ដំណើរធ្វើឲ្យច្បាស់លាស់នូវផល ) ១ កិលេសប្បហានៈ (កិរិយាលះបង់កិលេស) ១ វិនីវរណតា ចិត្តស្ស ចិត្តមាននីវរណៈចេញស្រឡះហើយ ១ សុញ្ញាគារេ អភិរតិ សេចក្ដីត្រេកអរក្នុងផ្ទះដ៏ស្ងាត់ ១ (ធម៌ទាំង ១០ នេះ) ហៅថាឧត្តរិមនុស្សធម្ម ។ ត្រង់ពាក្យថា បង្អោនមកដាក់ក្នុងខ្លួន សេចក្ដីថា បង្អោនកុសលធម៌ទាំងនោះមកដាក់ក្នុងចិត្ត ឬបង្អោនចិត្តទៅក្នុងកុសលធម៌ទាំងនោះ ។ ត្រង់ពាក្យថា ញាណ បានដល់វិជ្ជាគឺសេចក្ដីដឹងវិសេស ៣ យ៉ាង ។ ត្រង់ពាក្យថា ទស្សនៈ សេចក្ដីថា ធម្មជាតណា ហៅថា ញាណ ធម្មជាតនោះហៅថា ទស្សនៈ ធម្មជាតណាហៅថា ទស្សនៈ ធម្មជាតនោះហៅថា ញាណ ។ ត្រង់ពាក្យថា ពោលអួត សេចក្ដីថា ប្រាប់ដល់ស្រីក្ដី ប្រុសក្ដី គ្រហស្ថក្ដី បព្វជិតក្ដី ។ ត្រង់ពាក្យថា ខ្ញុំដឹងដូច្នេះ ខ្ញុំឃើញដូច្នេះ សេចក្ដីថា ខ្ញុំដឹងធម៌ទាំងនេះ ខ្ញុំ

កិលេសប្បហានន្តិ រាគស្ស បហានំ ទោសស្ស បហានំ មោហស្ស បហានំ ។ វិនីវរណតា ចិត្តស្សាតិ រាគា ចិត្តំ វិនីវរណតា ទោសា ចិត្តំ វិនីវរណតា មោហា ចិត្តំ វិនីវរណតា ។ សុញ្ញាគារេ អភិរតីតិ បឋមេន ឈានេន សុញ្ញាគារេ អភិរតិ ទុតិយេន ឈានេន សុញ្ញាគារេ អភិរតិ តតិយេន ឈានេន សុញ្ញាគារេ អភិរតិ ចតុត្ថេន ឈានេន សុញ្ញាគារេ អភិរតិ ។

(២៣៧) តីហាការេហិ បឋមំ ឈានំ សមាបជ្ជិន្តិ សម្បជានមុសា ភណន្តស្ស អាបត្តិ បារាជិកស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ ។ ចតូហាការេហិ បឋមំ ឈានំ សមាបជ្ជិន្តិ សម្បជានមុសា ភណន្តស្ស អាបត្តិ បារាជិកស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ វិនិធាយ ទិដ្ឋឹ ។



ត្រង់ពាក្យថា កិលេសប្បហាន (នោះ) បានខាងការលះបង់រាគៈ លះបង់ទោសៈ លះបង់មោហៈ ។ ត្រង់ពាក្យថា វិនីវរណតា ចិត្តស្ស (នោះ) បានខាងការហាមឃាត់ចិត្តចាករាគៈ ហាមឃាត់ចិត្តចាកទោសៈ ហាមឃាត់ចិត្តចាកមោហៈ ។ ត្រង់ពាក្យថា សុញ្ញាគារេ អភិរតិ (នោះ) បានខាងសេចក្តីត្រេកអរក្នុងផ្ទះស្ងាត់ ដោយបឋមជ្ឈាន សេចក្តីត្រេកអរក្នុងផ្ទះស្ងាត់ ដោយទុតិយជ្ឈាន សេចក្តីត្រេកអរក្នុងផ្ទះស្ងាត់ ដោយតតិយជ្ឈាន សេចក្តីត្រេកអរក្នុងផ្ទះស្ងាត់ ដោយចតុត្ថជ្ឈាន ។

(២៣៧) ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា អាត្មាបានចូលបឋមជ្ឈានហើយ ដោយអាការ ៣ យ៉ាងគឺ មុននឹងនិយាយ ដឹងខ្លួនថា អាត្មានឹងនិយាយកុហក ១ កំពុងនិយាយ ដឹងខ្លួនថា អាត្មាកំពុងនិយាយកុហក ១ និយាយរួចហើយ ដឹងខ្លួនថា អាត្មានិយាយកុហករួចហើយ ១ ត្រូវអាបត្តិបារាជិក ។ ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា អាត្មាបានចូលបឋមជ្ឈានហើយ ដោយអាការ ៤ យ៉ាងគឺ មុននឹងនិយាយ ដឹងខ្លួនថា អាត្មានិយាយកុហក ១ កំពុងនិយាយ ដឹងខ្លួនថា អាត្មាកំពុងនិយាយកុហក ១ និយាយរួចហើយ ដឹងខ្លួនថា អាត្មានិយាយកុហករួចហើយ ១ បិទបាំងសេចក្តីឃើញ ១ ត្រូវអាបត្តិបារាជិក ។

បញ្ចហាការេហិ បឋមំ ឈានំ សមាបជ្ជិន្តិ សម្បជានមុសា ភណន្តស្ស អាបត្តិ បារាជិកស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ វិនិធាយ ទិដ្ឋឹ វិនិធាយ ខន្តឹ ។ ឆហាការេហិ បឋមំ ឈានំ សមាបជ្ជិន្តិ សម្បជានមុសា ភណន្តស្ស អាបត្តិ បារាជិកស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ វិនិធាយ ទិដ្ឋឹ វិនិធាយ ខន្តឹ វិនិធាយ រុចឹ ។ សត្តហាការេហិ បឋមំ ឈានំ សមាបជ្ជិន្តិ សម្បជានមុសា ភណន្តស្ស អាបត្តិ បារាជិកស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ វិនិធាយ ទិដ្ឋឹ វិនិធាយ ខន្តឹ វិនិធាយ រុចឹ វិនិធាយ ភាវំ ។



ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា អាត្មាបានចូលបឋមជ្ឈានហើយ ដោយអាការ ៥ យ៉ាងគឺ មុនដំបូងនិយាយ ដឹងខ្លួនថា អាត្មានឹងនិយាយកុហក ១ កំពុងនិយាយ ដឹងខ្លួនថា អាត្មាកំពុងនិយាយកុហក ១ និយាយរួចហើយ ដឹងខ្លួនថា អាត្មានិយាយកុហករួចហើយ ១ បិទបាំងសេចក្ដីយល់ឃើញ ១ បិទបាំងសេចក្ដីគាប់ចិត្ត ១ ត្រូវអាបត្តិបារាជិក ។ ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា អាត្មាបានចូលបឋមជ្ឈានហើយ ដោយអាការ ៦ យ៉ាងគឺ មុនដំបូងនិយាយដឹងខ្លួនថា អាត្មានឹងនិយាយកុហក ១ កំពុងនិយាយ ដឹងខ្លួនថា អាត្មាកំពុងនិយាយកុហក ១ និយាយរួចហើយ ដឹងខ្លួនថា អាត្មានិយាយកុហករួចហើយ ១ បិទបាំងសេចក្ដីយល់ឃើញ ១ បិទបាំងសេចក្ដីគាប់ចិត្ត ១ បិទបាំងសេចក្ដីពេញចិត្ត ១ ត្រូវអាបត្តិបារាជិក ។ ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា អាត្មាបានចូលបឋមជ្ឈានហើយ ដោយអាការ ៧ យ៉ាងគឺ មុនដំបូងនិយាយ ដឹងខ្លួនថា អាត្មានឹងនិយាយកុហក ១ កំពុងនិយាយ ដឹងខ្លួនថា អាត្មាកំពុងនិយាយកុហក ១ និយាយរួចហើយ ដឹងខ្លួនថា អាត្មានិយាយកុហករួចហើយ ១ បិទបាំងសេចក្ដីយល់ឃើញ ១ បិទបាំងសេចក្ដីគាប់ចិត្ត ១ បិទបាំងសេចក្ដីពេញចិត្ត ១ បិទបាំងសេចក្ដីពិតត្រង់ ១ ត្រូវអាបត្តិបារាជិក ។

(២៣៨) តីហាការេហិ បឋមំ ឈានំ សមាបជ្ជឹតិ សម្បជានមុសា ភណន្តស្ស អាបត្តិ បារាជិកស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ ។ ចតូហាការេហិ បឋមំ ឈានំ សមាបជ្ជឹតិ សម្បជានមុសា ភណន្តស្ស អាបត្តិ បារាជិកស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ វិនិធាយ ទិដ្ឋឹ ។ បញ្ចហាការេហិ បឋមំ ឈានំ សមាបជ្ជឹតិ សម្បជានមុសា ភណន្តស្ស អាបត្តិ បារាជិកស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ វិនិធាយ ទិដ្ឋឹ វិនិធាយ ខន្តឹ ។ ឆហាការេហិ បឋមំ ឈានំ សមាបជ្ជឹតិ សម្បជានមុសា ភណន្តស្ស អាបត្តិ បារាជិកស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ



(២៣៨) ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា អាត្មាអញចូលបឋមជ្ឈាន ដោយអាការ ៣ យ៉ាងគឺ មុននឹងនិយាយ ដឹងខ្លួនថា អញនឹងនិយាយកុហក ១ កំពុងនិយាយ ដឹងខ្លួនថា អញកំពុងនិយាយកុហក ១ និយាយរួចហើយ ដឹងខ្លួនថា អញនិយាយកុហករួចហើយ ១ ត្រូវអាបត្តិបារាជិក ។ ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា អាត្មាអញចូលបឋមជ្ឈាន ដោយអាការ ៤ យ៉ាងគឺ មុននឹងនិយាយ ដឹងខ្លួនថា អញនឹងនិយាយកុហក ១ កំពុងនិយាយ ដឹងខ្លួនថា អញកំពុងនិយាយកុហក ១ និយាយរួចហើយ ដឹងខ្លួនថា អញនិយាយកុហករួចហើយ ១ បិទបាំងនូវសេចក្តីយល់ឃើញ ១ ត្រូវអាបត្តិបារាជិក ។ ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា អាត្មាអញចូលបឋមជ្ឈាន ដោយអាការ ៥ យ៉ាងគឺ មុននឹងនិយាយ ដឹងខ្លួនថា អញនឹងនិយាយកុហក ១ កំពុងនិយាយ ដឹងខ្លួនថា អញកំពុងនិយាយកុហក ១ និយាយរួចហើយ ដឹងខ្លួនថា អញនិយាយកុហករួចហើយ ១ បិទបាំងនូវសេចក្តីយល់ឃើញ ១ បិទបាំងនូវសេចក្តីគាប់ចិត្ត ១ ត្រូវអាបត្តិបារាជិក ។ ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា អាត្មាអញចូលបឋមជ្ឈាន ដោយអាការ ៦ យ៉ាងគឺ មុននឹងនិយាយ ដឹងខ្លួនថា អញនឹងនិយាយកុហក ១

ថុល្លច្ចយស្ស ន បដិវិជានន្តស្ស អាបត្តិ ទុក្កដស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ ។ ចតូហាការេហិ បញ្ចហាការេហិ ឆហាការេហិ សត្តហាការេហិ យោ តេ វិហារេ វសិ សោ ភិក្ខុ បឋមំ ឈានំ សមាបជ្ជិ សមាបជ្ជតិ សមាបន្នោ សោ ភិក្ខុ បឋមស្ស ឈានស្ស លាភី វសី តេន ភិក្ខុនា បឋមំ ឈានំ សច្ឆិកតន្តិ សម្បជានមុសា ភណន្តស្ស បដិវិជានន្តស្ស អាបត្តិ ថុល្លច្ចយស្ស ន បដិវិជានន្តស្ស អាបត្តិ ទុក្កដស្ស បុព្វេវស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ វិនិធាយ ទិដ្ឋិំ វិនិធាយ ខន្តិំ វិនិធាយ រុចិំ វិនិធាយ ភាវំ ។ តីហាការេហិ យោ តេ វិហារេ វសិ សោ ភិក្ខុ ទុតិយំ ឈានំ តតិយំ ឈានំ ចតុត្ថំ ឈានំ សុញ្ញតំ វិមោក្ខំ អនិមិត្តំ វិមោក្ខំ



ថុល្លច្ច័យ បើអ្នកស្តាប់មិនដឹងសេចក្តីច្បាស់ទេ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា ភិក្ខុណានៅក្នុងវិហាររបស់អ្នក ភិក្ខុនោះបានចូលហើយ កំពុងចូល បានចូលកាន់បឋមជ្ឈាន ភិក្ខុនោះជាអ្នកបានហើយ ជាអ្នកស្ទាត់ហើយ ក្នុងបឋមជ្ឈាន បឋមជ្ឈានភិក្ខុអង្គនោះ បានធ្វើឲ្យជាក់ច្បាស់ហើយ ដោយអាការ ៤.៥.៦.៧ យ៉ាងនេះ មុននឹងនិយាយ ដឹងខ្លួនថា អាត្មានឹងនិយាយកុហក ១ កំពុងនិយាយ ក៏ដឹងខ្លួនថា អាត្មាកំពុងនិយាយកុហក ១ លុះនិយាយរួចហើយ ក៏ដឹងខ្លួនថា អាត្មានិយាយកុហករួចហើយ ១ បិទបាំងសេចក្តីយល់ ១ បិទបាំងសេចក្តីគាប់ចិត្ត ១ បិទបាំងសេចក្តីពេញចិត្ត ១ បិទបាំងសេចក្តីគិតស្រេច ១ បើអ្នកស្តាប់ដឹងសេចក្តីច្បាស់ ត្រូវអាបត្តិថុល្លច្ច័យ បើអ្នកស្តាប់មិនដឹងសេចក្តីច្បាស់ទេ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា ភិក្ខុណានៅក្នុងវិហាររបស់អ្នក ភិក្ខុនោះបានចូលហើយ កំពុងចូល បានចូល កាន់ទុតិយជ្ឈាន កាន់តតិយជ្ឈាន កាន់ចតុត្ថជ្ឈាន កាន់សុញ្ញតវិមោក្ខ កាន់អនិមិត្តវិមោក្ខ

អប្បណិហិតោ វិមោក្ខោ សុញ្ញតោ សមាធិ អនិមិត្តោ សមាធិ អប្បណិហិតោ សមាធិ សុញ្ញតា សមាបត្តិ អនិមិត្តា សមាបត្តិ អប្បណិហិតា សមាបត្តិ តិស្សោ វិជ្ជា ចត្តារោ សតិប្បដ្ឋានា ចត្តារោ សម្មប្បធានា ចត្តារោ ឥទ្ធិបាទា បញ្ចិន្ទ្រិយានិ បញ្ច ពលានិ សត្ត ពោជ្ឈង្គា អរិយោ អដ្ឋង្គិកោ មគ្គោ សោតាបត្តិផលំ សកទាគាមិផលំ អនាគាមិផលំ អរហត្តផលំ សមាបជ្ជឹ សមាបជ្ជាមិ សមាបន្នោ សោ ភិក្ខុ អរហត្តផលស្ស លាភី វសី តេន ភិក្ខុនា អរហត្តផលំ សច្ឆិកតន្តិ សម្បជានមុសា ភណន្តស្ស បដិវិជានន្តស្ស អាបត្តិ ថុល្លច្ចយស្ស ន បដិវិជានន្តស្ស អាបត្តិ ទុក្កដស្ស ។ បេ ។ ទីឃាកាសេហិ យោ តេ វិហារេ វសិ តស្ស ភិក្ខុនោ រាគោ ចត្តោ ។ បេ ។ ទោសោ ចត្តោ ។ បេ ។ មោហោ ចត្តោ វន្តោ មុត្តោ បហីនោ បដិនិស្សដ្ឋោ ឧក្ខេដិតោ សមុក្ខេដិតោតិ សម្បជានមុសា ភណន្តស្ស បដិវិជានន្តស្ស អាបត្តិ ថុល្លច្ចយស្ស ន បដិវិជានន្តស្ស អាបត្តិ ទុក្កដស្ស ។ បេ ។



គាន់អប្បណិហិតវិមោក្ខ គាន់សុញ្ញតសមាធិ គាន់អនិមិត្តសមាធិ គាន់អប្បណិហិតសមាធិ គាន់សុញ្ញតសមាបត្តិ គាន់អនិមិត្តសមាបត្តិ គាន់អប្បណិហិតសមាបត្តិ គាន់វិជ្ជា ៣ គាន់សតិប្បដ្ឋាន ៤ គាន់សម្មប្បធាន ៤ គាន់ឥទ្ធិបាទ ៤ គាន់ឥន្ទ្រិយ ៥ គាន់ពល ៥ គាន់ពោជ្ឈង្គ ៧ គាន់មគ្គមានអង្គ ៨ ដ៏ប្រសើរ គាន់សោតាបត្តិផល គាន់សកទាគាមិផល គាន់អនាគាមិផល គាន់អរហត្តផល ភិក្ខុនោះជាអ្នកបាន ជាអ្នកស្ទាត់ក្នុងអរហត្តផល អរហត្តផល ភិក្ខុអង្គនោះបានធ្វើឲ្យជាក់ច្បាស់ហើយ ដោយអាការ ៣ យ៉ាងនេះ បើអ្នកស្ដាប់ដឹងសេចក្ដីច្បាស់ ត្រូវអាបត្តិថុល្លច្ច័យ បើអ្នកស្ដាប់មិនដឹងសេចក្ដីច្បាស់ទេ ត្រូវអាបត្តិទុក្កដ ។ បេ ។ ភិក្ខុនិយាយក្ដោងៗដោយចិត្តថា ភិក្ខុណាទៅនៅក្នុងវិហាររបស់អ្នក រាគៈភិក្ខុនោះបានកំចាត់ចេញហើយ ។ បេ ។ ទោសៈភិក្ខុនោះបានកំចាត់ចេញហើយ ។ បេ ។ ចំណែកមោហៈ ភិក្ខុនោះបានកំចាត់ចេញហើយ បានខ្ជាក់ចោលហើយ បាន (ធ្វើ) ឲ្យរួចស្រឡះហើយ បានបន្សាត់ចេញហើយ បានលះបង់ចោលហើយ បានរលាស់ចោលហើយ បានរំលាស់ចោលហើយ ដោយអាការ ៣ យ៉ាងនេះ បើអ្នកស្ដាប់ដឹងសេចក្ដីច្បាស់ ត្រូវអាបត្តិថុល្លច្ច័យ បើអ្នកស្ដាប់មិនដឹងសេចក្ដីច្បាស់ទេ ត្រូវអាបត្តិទុក្កដ ។ បេ ។

តីហាការេហិ យោ តេ វិហារេ វសិ តស្ស ភិក្ខុនោ រាគា ចិត្តំ វិនីវរណំ ទោសា ចិត្តំ វិនីវរណំ មោហា ចិត្តំ វិនីវរណន្តិ សម្បជានមុសា ភណន្តស្ស បដិវិជានន្តស្ស អាបត្តិ ថុល្លច្ចយស្ស ។ អបដិវិជានន្តស្ស អាបត្តិ ទុក្កដស្ស ។ បុព្វេ វស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ វិនិធាយ ទិដ្ឋឹ វិនិធាយ ខន្តឹ វិនិធាយ រុចឹ វិនិធាយ ភាវំ ។ តីហាការេហិ យោ តេ វិហារេ វសិ សោ ភិក្ខុ សុញ្ញាគារេ បឋមំ ឈានំ ទុតិយំ ឈានំ តតិយំ ឈានំ ចតុត្ថំ ឈានំ សមាបជ្ជិ សមាបជ្ជតិ សមាបន្នោ សោ ភិក្ខុ សុញ្ញាគារេ ចតុត្ថស្ស ឈានស្ស លាភី វសី តេន ភិក្ខុនា សុញ្ញាគារេ ចតុត្ថំ ឈានំ សច្ឆិកតន្តិ សម្បជានមុសា ភណន្តស្ស បដិវិជានន្តស្ស អាបត្តិ ថុល្លច្ចយស្ស ។ អបដិវិជានន្តស្ស អាបត្តិ ទុក្កដស្ស ។ បុព្វេ វស្ស ហោតិ មុសា ភណិស្សន្តិ ភណន្តស្ស



ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា ភិក្ខុណាទៅកាន់វិហាររបស់អ្នក ចិត្តរបស់ភិក្ខុនោះផុតស្រឡះហើយចាករាគៈ ចិត្តរបស់ភិក្ខុនោះផុតស្រឡះហើយចាកទោសៈ ចិត្តរបស់ភិក្ខុនោះ ផុតស្រឡះហើយចាកមោហៈ ដោយអាការ ៣ យ៉ាងគឺ មុននឹងនិយាយ ដឹងខ្លួនថា អញនឹងនិយាយកុហក កំពុងនិយាយ ក៏ដឹងខ្លួនថា អញកំពុងនិយាយកុហក លុះនិយាយរួចហើយ ក៏ដឹងខ្លួនថា អញនិយាយកុហករួចហើយ បិទបាំងសេចក្តីយល់ឃើញ បិទបាំងសេចក្តីគាប់ចិត្ត បិទបាំងសេចក្តីពេញចិត្ត បិទបាំងសេចក្តីពិតត្រង់ បើអ្នកស្តាប់ដឹងសេចក្តីច្បាស់ ត្រូវអាបត្តិថុល្លច្ច័យ បើអ្នកស្តាប់មិនដឹងសេចក្តីច្បាស់ទេ ត្រូវអាបត្តិទុក្កដ ។ ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា ភិក្ខុណាទៅកាន់វិហាររបស់អ្នក ភិក្ខុនោះបានចូលហើយ កំពុងចូល បានចូលកាន់បឋមជ្ឈាន កាន់ទុតិយជ្ឈាន កាន់តតិយជ្ឈាន កាន់ចតុត្ថជ្ឈាន ក្នុងផ្ទះដ៏ស្ងាត់ ភិក្ខុនោះជាអ្នកបាន ជាអ្នកស្ទាត់ ក្នុងចតុត្ថជ្ឈាន ក្នុងផ្ទះដ៏ស្ងាត់ ចតុត្ថជ្ឈាន ភិក្ខុនោះបានធ្វើឲ្យជាក់ច្បាស់ហើយក្នុងផ្ទះដ៏ស្ងាត់ ដោយអាការ ៣ យ៉ាងគឺ មុននឹងនិយាយ ដឹងខ្លួនថា អញនឹងនិយាយកុហក កំពុងនិយាយ ក៏ដឹងខ្លួនថា អញកំពុងនិយាយ

ហោតិ មុសា ភណាមីតិ ភណិតស្ស ហោតិ មុសា មយា ភណិតន្តិ វិនិធាយ ទិដ្ឋឹ វិនិធាយ ខន្តឹ វិនិធាយ រុចឹ វិនិធាយ ភាវំ ។

(៤៨០) តីហាការេហិ យោ តេ ចីវរំ បរិភុញ្ជិ យោ តេ បិណ្ឌបាតំ បរិភុញ្ជិ យោ តេ សេនាសនំ បរិភុញ្ជិ យោ តេ គិលានប្បច្ចយភេសជ្ជបរិក្ខារំ បរិភុញ្ជិ យេន តេ វិហារោ បរិភុត្តោ យេន តេ ចីវរំ បរិភុត្តំ យេន តេ បិណ្ឌបាតោ បរិភុត្តោ យេន តេ សេនាសនំ បរិភុត្តំ យេន តេ គិលានប្បច្ចយភេសជ្ជបរិក្ខារោ បរិភុត្តោ យំ ត្វំ អាគម្ម វិហារំ អទាសិ ចីវរំ អទាសិ បិណ្ឌបាតំ អទាសិ សេនាសនំ អទាសិ គិលានប្បច្ចយភេសជ្ជបរិក្ខារំ អទាសិ សោ ភិក្ខុ សុញ្ញាគារេ បឋមំ ឈានំ ទុតិយំ ឈានំ តតិយំ ឈានំ ចតុត្ថំ ឈានំ សមាបជ្ជិ សមាបជ្ជតិ សមាបន្នោ



កុហក លុះនិយាយរួចហើយ ក៏ដឹងខ្លួនថា អញនិយាយកុហករួចហើយ បិទបាំងនូវសេចក្ដីយល់ឃើញ បិទបាំងនូវសេចក្ដីគាប់ចិត្ត បិទបាំងនូវសេចក្ដីពេញចិត្ត បិទបាំងនូវសេចក្ដីគិតក្រែង បើអ្នកស្ដាប់ដឹងនូវសេចក្ដីច្បាស់ ត្រូវអាបត្តិថុល្លច្ច័យ បើអ្នកស្ដាប់មិនដឹងនូវសេចក្ដីច្បាស់ទេ ត្រូវអាបត្តិទុក្កដ ។

(៤៨០) ភិក្ខុនិយាយកុហកដោយដឹងខ្លួនថា ភិក្ខុណាបានប្រើប្រាស់ចីវររបស់អ្នក ភិក្ខុណាបានឆាន់បិណ្ឌបាតរបស់អ្នក ភិក្ខុណាបានប្រើប្រាស់សេនាសនៈរបស់អ្នក ភិក្ខុណាបានបរិភោគគិលានភេសជ្ជបរិក្ខារជាបច្ច័យដល់មនុស្សឈឺរបស់អ្នក វិហាររបស់អ្នកដែលភិក្ខុណាបាននៅហើយ ចីវររបស់អ្នកដែលភិក្ខុណាបានប្រើប្រាស់ហើយ បិណ្ឌបាតរបស់អ្នកដែលភិក្ខុណាបានឆាន់ហើយ សេនាសនៈរបស់អ្នកដែលភិក្ខុណាបានប្រើប្រាស់ហើយ គិលានភេសជ្ជបរិក្ខារជាបច្ច័យដល់មនុស្សឈឺដែលភិក្ខុណាបានបរិភោគហើយ អ្នកអាស្រ័យនូវភិក្ខុណា ហើយបានឲ្យនូវវិហារ បានឲ្យនូវចីវរ បានឲ្យនូវបិណ្ឌបាត បានឲ្យនូវសេនាសនៈ បានឲ្យនូវគិលានភេសជ្ជបរិក្ខារជាបច្ច័យដល់មនុស្សឈឺ ភិក្ខុនោះបានចូលហើយ កំពុងចូល បានចូលកាន់បឋមជ្ឈាន កាន់ទុតិយជ្ឈាន កាន់តតិយជ្ឈាន

អនាបត្តិ ភិក្ខុ បារាជិកស្ស ន ច ភិក្ខវេ បណិធាយ ចរិតព្វំ យោ ចរេយ្យ អាបត្តិ ទុក្កដស្សាតិ ។

(៦៨៨) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អញ្ញតរំ ភិក្ខុំ ឯតទវោច យេ អាវុសោ អម្ហាកំ ឧបជ្ឈាយស្ស សទ្ធិវិហារិកា សព្វេ វ អរហន្តោតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ កិំចិត្តោ ត្វំ ភិក្ខូតិ ។ ឧល្លបនាធិប្បាយោ អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អញ្ញតរំ ភិក្ខុំ ឯតទវោច យេ អាវុសោ អម្ហាកំ ឧបជ្ឈាយស្ស អន្តេវាសិកា សព្វេ វ មហិទ្ធិកា មហានុភាវាតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ កិំចិត្តោ ត្វំ ភិក្ខូតិ ។ ឧល្លបនាធិប្បាយោ អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។



សង្ស័យ ។បេ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកឯងមិនត្រូវអាបត្តិបារាជិកទេ ម្នាលភិក្ខុទាំងឡាយ ប៉ុន្តែ ភិក្ខុទាំងឡាយមិនត្រូវតាំងចិត្តនឹងដើរទៅបណ្ដោយតម្រេកសរសើរឡើយ ភិក្ខុណាដើរទៅ (ដោយគិតយ៉ាងនោះ) ភិក្ខុនោះត្រូវអាបត្តិទុក្កដ ។

(៦៨៨) សម័យនោះឯង មានភិក្ខុមួយរូបបានពោលពាក្យនឹងភិក្ខុមួយរូបថា ម្នាលអាវុសោ ពួកភិក្ខុណាដែលជាសទ្ធិវិហារិករបស់ឧបជ្ឈាយ៍នៃយើង ភិក្ខុទាំងនោះសុទ្ធតែជាអរហន្តទាំងអស់ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ ក៏ក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្តេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមានប្រាថ្នានឹងអួតអាង ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិថុល្លច្ច័យ ។ សម័យនោះ ភិក្ខុមួយរូបបានពោលពាក្យនឹងភិក្ខុមួយរូបថា ម្នាលអាវុសោ ពួកភិក្ខុណាដែលជាអន្តេវាសិកនៃឧបជ្ឈាយ៍របស់យើង ភិក្ខុទាំងអស់នោះ សុទ្ធតែជាអ្នកមានឫទ្ធិ មានអានុភាពច្រើន ។ ភិក្ខុនោះក៏មានសេចក្តីសង្ស័យ ។ ទើបក្រាបទូលដំណើរនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្តេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានបុណ្យ ខ្ញុំព្រះអង្គមានបំណងនឹងពោលអួត ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិថុល្លច្ច័យ ។

(៤៨៦) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ បណិធាយ ចង្កមតិ(១) ឯវំ មំ ជនោ សម្ភាវេស្សតីតិ ។ តំ ជនោ សម្ភាវេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស ន ច ភិក្ខវេ បណិធាយ ចង្កមិតព្វំ យោ ចង្កមេយ្យ អាបត្តិ ទុក្កដស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ បណិធាយ តិដ្ឋតិ ។បេ។ បណិធាយ និសីទតិ(២) ។បេ។ បណិធាយ សេយ្យំ កប្បេតិ(៣) ឯវំ មំ ជនោ សម្ភាវេស្សតីតិ ។ តំ ជនោ សម្ភាវេសិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស ន ច ភិក្ខវេ បណិធាយ សេយ្យា កប្បេតព្វា(៤) យោ កប្បេយ្យ អាបត្តិ ទុក្កដស្សាតិ ។

១ ម. ឆ. ចង្កមិ ។ ២ ម. ឆ. និសីទិ ។ ៣ សព្វត្ថ កប្បេសីតិ ទិស្សតិ ។ ៤ សព្វត្ថ សេយ្យំ កប្បេតព្វំ ទិស្សតិ ។



(៤៨៦) សម័យនោះ មានភិក្ខុមួយរូបដើរចង្ក្រមដោយតាំងចិត្តថា កាលបើអញចង្ក្រមយ៉ាងនេះ បណ្តាជននឹងសរសើរអញ ។ បណ្តាជនក៏បានសរសើរភិក្ខុនោះ(មែន) ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ ទើបក្រាបទូលដំណើរនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ម្នាលភិក្ខុទាំងឡាយ ប៉ុន្តែអ្នកទាំងឡាយមិនត្រូវដើរចង្ក្រមដោយតាំងចិត្ត (នឹងឲ្យគេសរសើរដូច្នោះ) ឡើយ ភិក្ខុណាដើរចង្ក្រម (ដោយគិតយ៉ាងនោះ) ភិក្ខុនោះត្រូវអាបត្តិទុក្កដ ។ សម័យនោះ មានភិក្ខុមួយរូបឈរដោយតាំងចិត្ត ។បេ។ អង្គុយដោយតាំងចិត្ត ។បេ។ ដេកដោយតាំងចិត្តថា កាលបើអញដេកយ៉ាងនេះ អ្នកផងនឹងសរសើរអញ ។ អ្នកផងក៏សរសើរភិក្ខុនោះ(មែន) ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ ទើបក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ម្នាលភិក្ខុទាំងឡាយ ប៉ុន្តែអ្នកទាំងឡាយមិនត្រូវសម្រេចឥរិយាបថដេកដោយតាំងចិត្ត (នឹងឲ្យគេសរសើរដូច្នោះ) ឡើយ ភិក្ខុណាសម្រេច (ឥរិយាបថយ៉ាងនោះ) ភិក្ខុនោះត្រូវអាបត្តិទុក្កដ ។

(៦៨៧) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អញ្ញតរស្ស ភិក្ខុនោ ឧត្តរិមនុស្សធម្មំ ឧល្លបតិ ។ សោបិ ឯវមាហ មយ្ហំបិ អាវុសោ សញ្ញោជនា បហីនាតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អាបត្តឹ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៦៨៨) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ រហោគតោ ឧត្តរិមនុស្សធម្មំ ឧល្លបតិ ។ បរចិត្តវិទូ ភិក្ខុ តំ ភិក្ខុំ អបសាទេសិ មា អាវុសោ ឯវរូបំ អភណិ នត្ថេសោ តុយ្ហន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ រហោគតោ ឧត្តរិមនុស្សធម្មំ ឧល្លបតិ ។ ទេវតា តំ ភិក្ខុំ អបសាទេសិ មា ភន្តេ ឯវរូបំ អភណិ នត្ថេសោ តុយ្ហន្តិ ។



(៦៨៧) សម័យនោះ មានភិក្ខុមួយរូបពោលអួតឧត្តរិមនុស្សធម្មដល់ភិក្ខុមួយរូប ។ ភិក្ខុដែលអ្នកនោះបាននិយាយយ៉ាងនេះថា ម្នាលអាវុសោ សញ្ញោជនធម៌ទាំងឡាយ ខ្ញុំលះបង់អស់ហើយ ។ ភិក្ខុអ្នកអួតនោះក៏មានសេចក្ដីសង្ស័យ ។ បានក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៦៨៨) សម័យនោះ មានភិក្ខុមួយរូបទៅនៅក្នុងទីស្ងាត់ ក៏ពោលអួតឧត្តរិមនុស្សធម្ម ។ មានភិក្ខុអ្នកបានបរចិត្តវិជ្ជា គឺការកំណត់ដឹងចិត្តរបស់អ្នកដទៃ លោកបានហាមប្រាមភិក្ខុនោះថា ម្នាលអាវុសោ លោកកុំនិយាយអួតឧត្តរិមនុស្សធម្មយ៉ាងនេះឡើយ (ព្រោះ) ឧត្តរិមនុស្សធម្មនុ៎ះមិនមានដល់ខ្លួនលោកទេ ។ ភិក្ខុនោះក៏មានសេចក្ដីសង្ស័យ ។ ទើបក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិទុក្កដ ។ ក្នុងសម័យនោះ មានភិក្ខុមួយរូបទៅនៅក្នុងទីស្ងាត់ ហើយពោលអួតឧត្តរិមនុស្សធម្ម ។ ទេវតាបានពោលឃាត់ហាមភិក្ខុនោះថា បពិត្រលោកម្ចាស់ លោកកុំពោលអួតឧត្តរិមនុស្សធម្មយ៉ាងនេះ (ព្រោះ) ឧត្តរិមនុស្សធម្មនុ៎ះមិនទាន់មានដល់ខ្លួនលោកទេ ។

តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ទុក្កដស្សាតិ ។

[២៨៩] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អញ្ញតរំ ឧបាសកំ ឯតទវោច យោ អាវុសោ តុម្ហាកំ វិហារេ វសតិ សោ ភិក្ខុ អរហាតិ ។ សោ ច ភិក្ខុ[១] តស្ស វិហារេ វសតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ កិំចិត្តោ ត្វំ ភិក្ខូតិ ។ ឧល្លបនាធិប្បាយោ អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អញ្ញតរំ ឧបាសកំ ឯតទវោច យំ ត្វំ អាវុសោ ភិក្ខុំ ឧបដ្ឋាសិ[២] ចីវរបិណ្ឌបាតសេនាសនគិលានប្បច្ចយភេសជ្ជបរិក្ខារេន សោ ភិក្ខុ អរហាតិ ។ សោ ច តំ ភិក្ខុំ ឧបដ្ឋាតិ[៣] ចីវរបិណ្ឌបាតសេនាសនគិលានប្បច្ចយភេសជ្ជបរិក្ខារេន ។ តស្ស កុក្កុច្ចំ អហោសិ ។

១ ម. ម. ភិក្ខុសទ្ទោ អយំ បាឋោ ន ទិស្សតិ ។ ២ ម. ម. ឧបដ្ឋេសិ ។ ៣ ម. ម. ឧបដ្ឋេតិ ។



ភិក្ខុនោះក៏មានសេចក្តីសង្ស័យ ។ ទើបក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិទុក្កដ ។

(២៨៩) សម័យនោះ មានភិក្ខុមួយរូបបាននិយាយនឹងឧបាសកម្នាក់ថា ម្នាលអ្នកដ៏មានអាយុ ភិក្ខុណានៅក្នុងវិហាររបស់អ្នក ភិក្ខុនោះជាព្រះអរហន្ត ។ ឯភិក្ខុនោះនៅក្នុងវិហាររបស់ឧបាសកនោះ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ ទើបក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្តេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមានចំណង់នឹងពោលអួត ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិថុល្លច្ច័យ ។ ក្រោយនោះ មានភិក្ខុមួយរូបបាននិយាយពាក្យនេះនឹងឧបាសកម្នាក់ថា ម្នាលអ្នកដ៏មានអាយុ អ្នកបានបម្រើភិក្ខុអង្គណា ដោយចីវរ បិណ្ឌបាត សេនាសនៈ និងភេសជ្ជបរិក្ខារជាបច្ច័យដល់មនុស្សមានជម្ងឺ ភិក្ខុអង្គនោះជាព្រះអរហន្ត ។ ឯឧបាសកនោះក៏តែងបម្រើភិក្ខុនោះ ដោយចីវរ បិណ្ឌបាត សេនាសនៈ និងភេសជ្ជបរិក្ខារជាបច្ច័យដល់មនុស្សមានជម្ងឺ ។ ភិក្ខុនោះក៏មានសេចក្តីសង្ស័យ ។ ទើបក្រាបទូល

ភគវតោ ឯតមត្ថំ អារោចេសិ ។ កិំចិត្តោ ត្វំ ភិក្ខូតិ ។ ឧល្លបនាធិប្បាយោ អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។

[២៩០] តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ ឯតទវោចុំ អត្ថាយ-ស្មតោ ឧត្តរិមនុស្សធម្មោតិ ។ នាវុសោ ទុក្ករំ អញ្ញំ ព្យាកាតុន្តិ ។ តស្ស កុក្កុច្ចំ អហោសិ យេ ខោ តេ ភគវតោ សាវកា តេ ឯវំ វទេយ្យុំ អហញ្ច ខោ ភគវ-តោ សាវកោ កច្ចិ នុ ខោ អហំ បារាជិកំ អាបត្តិំ អាបន្នោតិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ កិំចិត្តោ ត្វំ ភិក្ខូតិ ។ អនុល្លបនាធិប្បាយោ អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ អនុល្លបនាធិប្បាយស្សាតិ(១) ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។

១ ឥតោ បុព្វ [illegible] ឯកំ វត្ថុ អតិរេកំ ហោតិ ។ តត្ថ ហិ វុត្តំ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ ឯតទវោចុំ អត្ថាយស្មតោ ឧត្តរិមនុស្ស-ធម្មោតិ ។ ន អាវុសោ ទុក្ករំ អញ្ញាតុន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អនុល្លបនាធិប្បាយស្សាតិ ។ តំ សព្វេសុ បោត្ថកេសុ ន ទិស្សតិ ។



រឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្តេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមានបំណងនឹងពោលអួត ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រូវអាបត្តិថុល្លច្ច័យ ។

(២៩០) សម័យនោះ មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយបានសួរភិក្ខុនោះថា លោកដ៏មានអាយុបានសម្រេចដល់ឧត្តរិមនុស្សធម្មហើយឬ ។ ភិក្ខុនោះឆ្លើយតបថា ម្នាលអាវុសោទាំងឡាយ កិរិយាដែលនឹងធ្វើឲ្យជាក់ច្បាស់នូវអរហត្តផល មិនមែនក្រឡើយ ។ ភិក្ខុនោះក៏មានសេចក្តីសង្ស័យថា ភិក្ខុទាំងឡាយឯណា ដែលជាសាវករបស់ព្រះដ៏មានព្រះភាគ លោកទាំងឡាយនោះទើបគួរពោលយ៉ាងនេះ ក៏ខ្លួនអញមិនទាន់បានជាសាវករបស់ព្រះដ៏មានព្រះភាគនៅឡើយ អញប្រហែលត្រូវអាបត្តិបារាជិកហើយដឹង ។ (លុះគិតដូច្នេះហើយ) ទើបក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្តេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមិនមានបំណងនឹងពោលអួតទេ ។ ទើបព្រះអង្គត្រាស់ថា ម្នាលភិក្ខុ ភិក្ខុដែលមិនមានបំណងនឹងពោលអួត មិនត្រូវអាបត្តិទេ ។ ក្នុងសម័យនោះ មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយបានសួរភិក្ខុនោះថា

អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ ឯតទវោចុំ អត្ថាយស្មតោ ឧត្តរិមនុស្សធម្មោតិ ។ អារាធនីយោ ខោ អាវុសោ ធម្មោ សម្មាបយុត្តេនាតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អនុល្លបនាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ ឯតទវោចុំ អត្ថាយស្មតោ ឧត្តរិមនុស្សធម្មោតិ ។ អារាធនីយោ ខោ អាវុសោ ធម្មោ អារទ្ធវីរិយេនាតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អនុល្លបនាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ ឯតទវោចុំ អត្ថាយស្មតោ ឧត្តរិមនុស្សធម្មោតិ ។ អារាធនីយោ ខោ អាវុសោ ធម្មោ យុត្តយោគេនាតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អនុល្លបនាធិប្បាយស្សាតិ ។



មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយសួរភិក្ខុនោះថា លោកដ៏មានអាយុ មានឧត្តរិមនុស្សធម្មដែរឬ ។ ភិក្ខុនោះតបថា ម្នាលអាវុសោទាំងឡាយ ធម្មជាតអ្នកដែលប្រកបដោយព្យាយាមត្រូវហើយ រមែងញុំាងព្រះធម៌ឲ្យប្រព្រឹត្តសម្រេចបាន ។ ភិក្ខុនោះក៏មានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកដែលមិនមានបំណងនឹងពោលអួត មិនត្រូវអាបត្តិឡើយ ។ គ្រានោះ មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយសួរភិក្ខុនោះថា លោកដ៏មានអាយុ មានឧត្តរិមនុស្សធម្មដែរឬ ។ ភិក្ខុនោះតបថា ម្នាលអាវុសោទាំងឡាយ ធម្មជាតអ្នកមានព្យាយាមប្រារព្ធហើយ រមែងញុំាងព្រះធម៌ឲ្យប្រព្រឹត្តសម្រេចបាន ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកដែលមិនមានបំណងនឹងពោលអួត មិនត្រូវអាបត្តិទេ ។ សម័យនោះ មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយសួរភិក្ខុនោះថា លោកដ៏មានអាយុ មានឧត្តរិមនុស្សធម្មដែរឬ ។ ភិក្ខុនោះឆ្លើយតបថា ម្នាលអាវុសោទាំងឡាយ ធម្មជាតអ្នកមានព្យាយាមប្រកបត្រូវហើយ រមែងញុំាងព្រះធម៌ឲ្យប្រព្រឹត្តសម្រេចបាន ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកដែលមិនមានបំណងនឹងពោលអួត មិនត្រូវអាបត្តិទេ ។

តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ ឯតទវោចុំ កច្ចាវុសោ ខមនីយំ កច្ចិ យាបនីយន្តិ ។ នាវុសោ សក្កា យេន វា តេន វា អធិវាសេតុន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ អនាបត្តិ ភិក្ខុ អនុល្លបនាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ គិលានោ ហោតិ ។ តំ ភិក្ខូ ឯតទវោចុំ កច្ចាវុសោ ខមនីយំ កច្ចិ យាបនីយន្តិ ។ នាវុសោ សក្កា បុថុជ្ជនេន អធិវាសេតុន្តិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ កឹចិត្តោ ត្វំ ភិក្ខូតិ ។ ឧល្លបនាធិប្បាយោ អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ បារាជិកស្ស អាបត្តិ ថុល្លច្ចយស្សាតិ ។

[២៩០] តេន ខោ បន សមយេន អញ្ញតរោ ព្រាហ្មណោ ភិក្ខូ និមន្តេត្វា ឯតទវោច អាយន្តុ ភោន្តោ អរហន្តោតិ ។ តេសំ កុក្កុច្ចំ អហោសិ



សម័យនោះ មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយបានសួរភិក្ខុនោះថា ម្នាលអាវុសោ លោកល្មមអត់ធន់បានទេឬ លោកល្មមប្រព្រឹត្តទៅបានឬទេ ។ ភិក្ខុនោះតបថា ម្នាលអាវុសោទាំងឡាយ បុគ្គលៈក្រៅការមិនគាប់ចិត្តអត់ធន់បានឡើយ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ អ្នកដែលមិនមានបំណងនឹងនិយាយអួត មិនត្រូវអាបត្តិទេ ។ សម័យនោះ មានភិក្ខុមួយរូបមានជម្ងឺ ។ ភិក្ខុទាំងឡាយបានសួរភិក្ខុនោះថា ម្នាលអាវុសោ លោកល្មមអត់ធន់បានទេឬ លោកល្មមប្រព្រឹត្តទៅបានទេឬ ។ ភិក្ខុនោះតបថា ម្នាលអាវុសោទាំងឡាយ បុគ្គលជាបុថុជ្ជនមិនអាចនឹងអត់ធន់បានឡើយ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យ ។ បេ ។ បានក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្ដេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមានបំណងនឹងនិយាយអួត ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុ មិនត្រូវអាបត្តិបារាជិកទេ ត្រូវតែត្រឹមអាបត្តិថុល្លច្ច័យ ។

[២៩១] សម័យនោះ មានព្រាហ្មណ៍ម្នាក់បាននិមន្តពួកភិក្ខុ ហើយបានពោលពាក្យទូលថា បពិត្រលោកដ៏ចំរើនទាំងឡាយ សូមលោកជាអរហន្តទាំងឡាយនិមន្តចូលមក ។ ភិក្ខុទាំងនោះក៏មានសេចក្ដីសង្ស័យថា

មយញ្ចម្ហា ន អរហន្តោ(១) អយញ្ច ព្រាហ្មណោ អម្ហេ អរហន្តវាទេន សមុទាចរតិ កថំ នុ ខោ អម្ហេហិ បដិបជ្ជិតព្វន្តិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អនាបត្តិ ភិក្ខវេ បសាទភញ្ញេតិ ។ តេន ខោ បន សមយេន អញ្ញតរោ ព្រាហ្មណោ ភិក្ខូ និមន្តេត្វា ឯតទវោច និសីទន្តុ ភោន្តោ អរហន្តោតិ ។ បេ ។ ភុញ្ជន្តុ ភោន្តោ អរហន្តោតិ ។ បេ ។ តប្បេន្តុ ភោន្តោ អរហន្តោតិ ។ បេ ។ គច្ឆន្តុ ភោន្តោ អរហន្តោតិ ។ តេសំ កុក្កុច្ចំ អហោសិ មយញ្ចម្ហា ន អរហន្តោ អយញ្ច ព្រាហ្មណោ អម្ហេ អរហន្តវាទេន សមុទាចរតិ កថំ នុ ខោ អម្ហេហិ បដិបជ្ជិតព្វន្តិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អនាបត្តិ ភិក្ខវេ បសាទភញ្ញេតិ ។

(២៨២) តេន ខោ បន សមយេន អញ្ញតរោ ភិក្ខុ អញ្ញតរស្ស ភិក្ខុនោ ឧត្តរិមនុស្សធម្មំ ឧល្លបតិ ។ សោបិ ឯវមាហ មយ្ហំបិ អាវុសោ អាសវា បហីនាតិ ។

១ ម. ឧ. អរហន្តា ។



យើងទាំងឡាយ មិនមែនជាព្រះអរហន្តទេ ប៉ុន្តែ ព្រាហ្មណ៍នេះនិយាយ លើកយើងទាំងឡាយដោយពាក្យថា ព្រះអរហន្ត យើងគប្បីប្រតិបត្តិដូចម្តេចហ្ន៎ ។ ទើបភិក្ខុទាំងនោះក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ ព្រាហ្មណ៍ពោលដោយសេចក្តីជ្រះថ្លា មិនត្រូវអាបត្តិទេ ។ សម័យនោះ មានព្រាហ្មណ៍ម្នាក់និមន្តភិក្ខុទាំងឡាយហើយបានពោលពាក្យថា បពិត្រលោកដ៏ចំរើនទាំងឡាយ សូមលោកជាអរហន្តទាំងឡាយនិមន្តគង់ ។ បេ ។ បពិត្រលោកដ៏ចំរើនទាំងឡាយ សូមលោកជាអរហន្តទាំងឡាយនិមន្តឆាន់ ។ បេ ។ បពិត្រលោកដ៏ចំរើនទាំងឡាយ សូមលោកជាអរហន្តទាំងឡាយនិមន្តឆាន់ឲ្យឆ្អែត ។ បេ ។ បពិត្រលោកដ៏ចំរើនទាំងឡាយ សូមលោកជាអរហន្តទាំងឡាយនិមន្តទៅចុះ ។ ភិក្ខុទាំងនោះក៏មានសេចក្តីសង្ស័យថា យើងទាំងឡាយមិនមែនជាអរហន្តទេ តែព្រាហ្មណ៍នេះនិយាយលើកយើងដោយពាក្យថា ព្រះអរហន្ត យើងគួរប្រតិបត្តិដូចម្តេចហ្ន៎ ។ ភិក្ខុទាំងនោះក៏ក្រាបទូលរឿងនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គទ្រង់ត្រាស់ថា ម្នាលភិក្ខុទាំងឡាយ ព្រាហ្មណ៍ពោលដោយសេចក្តីជ្រះថ្លា មិនត្រូវអាបត្តិទេ ។

(២៨២) សម័យនោះ មានភិក្ខុមួយរូបពោលឧត្តរិមនុស្សធម្ម ចំពោះភិក្ខុមួយរូប ។ ភិក្ខុដែលគេពោលនោះក៏បាននិយាយយ៉ាងនេះថា

ភគវតោ ឯតមត្ថំ អារោចេសិ ។ កឹចិត្តោ ត្វំ ភិក្ខូតិ ។ អនុល្លបនាធិប្បាយោ អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ អនុល្លបនាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរំ ភិក្ខុំ ញាតកា ឯតទវោចុំ ឯហិ ភន្តេ កាមេ បរិភុញ្ជាតិ ។ អភព្វា មេ អាវុសោ កាមាតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ កឹចិត្តោ ត្វំ ភិក្ខូតិ ។ អនុល្លបនាធិប្បាយោ អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ អនុល្លបនាធិប្បាយស្សាតិ ។ តេន ខោ បន សមយេន អញ្ញតរំ ភិក្ខុំ ញាតកា ឯតទវោចុំ អភិ-រមសិ ភន្តេតិ ។ អភិរតោ អហំ អាវុសោ បរមាយ អភិរតិយាតិ ។ តស្ស កុក្កុច្ចំ អហោសិ ។ បេ ។



ក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្តេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គគ្មានបំណងនឹងពោលលួងទេ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ អ្នកដែលគ្មានបំណងនឹងពោលលួងមិនត្រូវអាបត្តិទេ ។ សម័យនោះ ជនទាំងឡាយជាញាតិបាននិមន្តភិក្ខុមួយរូបថា បពិត្រលោកដ៏ចំរើន សូមលោកនិមន្តមកបរិភោគកាមទាំងឡាយចុះ ។ ភិក្ខុនោះឆ្លើយតបថា ម្នាលអ្នកដ៏មានអាយុទាំងឡាយ កាមទាំងឡាយ អាត្មាឃាត់ចិត្តផុតហើយ ។ ភិក្ខុនោះមានសេចក្តីសង្ស័យ ។ ទើបក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្តេច ។ ភិក្ខុនោះក្រាបទូលថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គមិនមានបំណងនឹងពោលលួងទេ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ អ្នកដែលគ្មានបំណងនឹងលួង មិនត្រូវអាបត្តិទេ ។ សម័យនោះ ជនទាំងឡាយជាញាតិបាននិមន្តភិក្ខុមួយរូបថា បពិត្រលោកដ៏ចំរើន លោកម្ចាស់ត្រេកសប្បាយដែរឬទេ ។ ភិក្ខុនោះនិយាយថា ម្នាលអ្នកដ៏មានអាយុទាំងឡាយ អាត្មាត្រេកសប្បាយដែរ (តែត្រេកសប្បាយ) ដោយសេចក្តីសប្បាយដ៏ខ្ពស់ ។ ភិក្ខុនោះមានសេចក្តីសង្ស័យថា ភិក្ខុទាំងឡាយណា

យេ ភគវតោ សាវកា តេ បរំ វទេយ្យុំ អហញ្ចម្ហិ ច ភគវតោ សាវកោ កច្ចិ នុ ខោ អហំ បារាជិកំ អាបត្តិំ អាបន្នោតិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ កឹចិត្តោ ត្វំ ភិក្ខូតិ ។ អនុល្លបនាធិប្បាយោ អហំ ភគវាតិ ។ អនាបត្តិ ភិក្ខុ អនុល្លបនាធិប្បាយស្សាតិ ។

(៤៨៦) តេន ខោ បន សមយេន សម្ពហុលា ភិក្ខូ កតិកំ កត្វា អញ្ញតរស្មិំ អាវាសេ វស្សំ ឧបគច្ឆិំសុ យោ ឥមម្ហា អាវាសា បឋមំ បក្កមិស្សតិ តំ មយំ អរហាតិ ជានិស្សាមាតិ ។ អញ្ញតរោ ភិក្ខុ មំ អរហាតិ ជានន្តូតិ តម្ហា អាវាសា បឋមំ បក្កាមិ ។ តស្ស កុក្កុច្ចំ អហោសិ កច្ចិ នុ ខោ អហំ បារាជិកំ អាបត្តិំ អាបន្នោតិ ។ ភគវតោ ឯតមត្ថំ អារោចេសិ ។ អាបត្តិំ ត្វំ ភិក្ខុ អាបន្នោ បារាជិកន្តិ ។

(៤៨៧) តេន សមយេន ពុទ្ធោ ភគវា រាជគហេ វិហរតិ វេឡុវនេ កលន្ទកនិវាបេ ។ តេន ខោ បន សមយេន អាយស្មា ច លក្ខណោ អាយស្មា ច មហាមោគ្គល្លានោ គិជ្ឈកូដេ បព្វតេ វិហរន្តិ ។



មួយដែលជាសាវករបស់ព្រះដ៏មានព្រះភាគ ភិក្ខុនោះនោះរើបខ្លួនការ ការក្បាយនឹងនេះថា ក៏ខ្លួនអញមិនមែនជាសាវករបស់ព្រះដ៏មានព្រះភាគទេ ៖ អញត្រូវអាបត្តិបារាជិកហើយឬនៅ ។ ភិក្ខុនោះក៏ក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់សួរថា ម្នាលភិក្ខុ អ្នកឯងមានចិត្តគិតដូចម្ដេច ។ ភិក្ខុនោះក៏ទូលតបថា បពិត្រព្រះដ៏មានព្រះភាគ ខ្ញុំព្រះអង្គគ្មានបំណងនឹងនិយាយអួតទេ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ អ្នកដែលគ្មានបំណងនឹងនិយាយអួត មិនត្រូវអាបត្តិទេ ។

(៤៨៦) សម័យនោះ មានភិក្ខុច្រើនរូបនៅចាំវស្សាក្នុងអាវាសមួយ ធ្វើកតិកា (ណាត់គ្នា) ថា ភិក្ខុអង្គណានឹងចេញចាកអាវាសនេះមុនគេ យើងនឹងដឹងថា ភិក្ខុអង្គនោះជាព្រះអរហន្ត ។ មានភិក្ខុមួយរូបចេញចាកអាវាសនោះមុនគេ ដោយគិតថា ភិក្ខុទាំងនោះនឹងដឹងនូវអញថា ជាព្រះអរហន្តចុះ ។ ភិក្ខុនោះមានសេចក្ដីសង្ស័យថា អញត្រូវអាបត្តិបារាជិកហើយឬនៅ ។ ក៏ក្រាបទូលសេចក្ដីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុ អ្នកឯងត្រូវអាបត្តិបារាជិកហើយ ។

(៤៨៧) គ្រានោះ ព្រះពុទ្ធដ៏មានព្រះភាគ ទ្រង់គង់នៅក្នុងវត្តវេឡុវ័ន កលន្ទកនិវាបស្ថាន ។ សម័យនោះ ព្រះលក្ខណត្ថេរនិងព្រះមហាមោគ្គ- ល្លានត្ថេរដ៏មានអាយុ គង់នៅលើភ្នំគិជ្ឈកូដ ។ គ្រានោះឯង ព្រះមហា-

អថខោ អាយស្មា មហាមោគ្គល្លានោ បុព្វណ្ហសមយំ
និវាសេត្វា បត្តចីវរមាទាយ យេនាយស្មា លក្ខណោ
តេនុបសង្កមិ ឧបសង្កមិត្វា អាយស្មន្តំ លក្ខណំ ឯតទ-
វោច អាយាមាវុសោ លក្ខណ រាជគហំ បិណ្ឌាយ
បវិសិស្សាមាតិ ។ ឯវមាវុសោតិ ខោ អាយស្មា
លក្ខណោ អាយស្មតោ មហាមោគ្គល្លានស្ស បច្ចស្សោ-
សិ ។ អថខោ អាយស្មា មហាមោគ្គល្លានោ គិជ្ឈកូដា
បព្វតា ឱរោហន្តោ អញ្ញតរស្មឹ បទេសេ សិតំ
បាត្វាកាសិ ។ អថខោ អាយស្មា លក្ខណោ
អាយស្មន្តំ មហាមោគ្គល្លានំ ឯតទវោច កោ នុ
ខោ អាវុសោ មហាមោគ្គល្លាន ហេតុ កោ បច្ចយោ
សិតស្ស បាតុកម្មាយាតិ ។ អកាលោ ខោ អាវុសោ
លក្ខណ ឯតស្ស បញ្ហស្ស វេយ្យាករណាយ[1] ភគ-
វតោ មំ សន្តិកេ ឯតំ បញ្ហំ បុច្ឆាតិ ។ អថខោ
អាយស្មា ច លក្ខណោ អាយស្មា ច មហាមោគ្គល្លានោ
រាជគហេ បិណ្ឌាយ ចរិត្វា បច្ឆាភត្តំ បិណ្ឌបាតប្ប-
ដិក្កន្តា យេន ភគវា តេនុបសង្កមឹសុ ឧបសង្កមិត្វា

១ ឱ. ម. វេយ្យាករណស្ស ឥតិ បាឋោ ទិស្សតិ ។



មោគ្គល្លានត្ថេរដ៏មានអាយុ ស្លៀកស្បង់ទ្រទ្រង់បាត្រនិងចីវរ ចូលសំដៅទៅ
រកទីដែលព្រះលក្ខណត្ថេរគង់ ក្នុងវេលាបុព្វណ្ហសម័យ លុះចូលទៅ
ដល់ហើយ បាននិយាយពាក្យនេះនឹងព្រះលក្ខណត្ថេរដ៏មានអាយុថា ម្នាល
អាវុសោលក្ខណៈ មកយើងនឹងចូលទៅកាន់ក្រុងរាជគ្រឹះដើម្បីបិណ្ឌបាត ។
ព្រះលក្ខណត្ថេរដ៏មានអាយុ ក៏ទទួលពាក្យព្រះមហាមោគ្គល្លានត្ថេរដ៏មាន
អាយុថា ករុណា អាវុសោ ។ គ្រាដែលព្រះមហាមោគ្គល្លានត្ថេរដ៏មាន
អាយុ កំពុងតែចុះអំពីភ្នំគិជ្ឈកូដ (ដល់មក) ត្រង់កន្លែងមួយក៏បានធ្វើនូវ
ញញឹមឲ្យប្រាកដ ។ លំដាប់នោះ ព្រះលក្ខណត្ថេរដ៏មានអាយុ ក៏សួរ
ព្រះមហាមោគ្គល្លានត្ថេរដ៏មានអាយុថា ម្នាលអាវុសោមហាមោគ្គល្លាន អ្វី
ជាហេតុ អ្វីជាបច្ច័យ ដល់ការធ្វើនូវញញឹមឲ្យប្រាកដ (នេះ) ។
ព្រះមហាមោគ្គល្លានត្ថេរឆ្លើយតបថា ម្នាលអាវុសោលក្ខណៈ កាលនេះ
មិនមែនជាកាលគួរនឹងព្យាករប្រស្នានេះទេ លោកចូរសួរប្រស្នានេះនឹងខ្ញុំ
ក្នុងសំណាក់ព្រះដ៏មានព្រះភាគចុះ ។ លំដាប់នោះ ព្រះលក្ខណត្ថេរដ៏មាន
អាយុ នឹងព្រះមហាមោគ្គល្លានត្ថេរដ៏មានអាយុ ក៏ចូលទៅបិណ្ឌបាតក្នុង
ក្រុងរាជគ្រឹះហើយត្រឡប់អំពីបិណ្ឌបាតក្នុងវេលាក្រោយភត្ត ទើបចូលទៅ
គាល់ព្រះដ៏មានព្រះភាគ លុះចូលទៅដល់ហើយក៏ថ្វាយបង្គំព្រះដ៏មានព្រះ

វិបាចេន្តិ ឧត្តរិមនុស្សធម្មំ អាយស្មា មហាមោគ្គ-ល្លានោ ឧល្លបតីតិ ។ អថខោ ភគវា ភិក្ខូ អាមន្តេសិ ចក្ខុភូតា ភិក្ខវេ សាវកា វិហរន្តិ ញាណភូតា ភិក្ខវេ សាវកា វិហរន្តិ យត្រ ហិ នាម សាវកោ ឯវរូបំ ញស្សតិ វា ទក្ខតិ វា សច្ឆិ វា ករិស្សតិ ។ បុព្វេវ មេ សោ ភិក្ខវេ សត្តោ ទិដ្ឋោ អហោសិ អបិចាហំ ន ព្យាកាសឹ អហំ ចេតំ ព្យាករេយ្យំ បរេ ច មេ ន សទ្ទហេយ្យុំ យេ មេ ន សទ្ទហេយ្យុំ តេសន្តំ អស្ស ទីឃរត្តំ អហិតាយ ទុក្ខាយ ។ សោ ភិក្ខវេ សត្តោ ឥមស្មិំ-យេវ រាជគហេ គោឃាតកោ អហោសិ ។ សោ តស្ស កម្មស្ស វិបាកេន ពហូនិ វស្សានិ ពហូនិ វស្សសតានិ ពហូនិ វស្សសហស្សានិ ពហូនិ វស្ស-សតសហស្សានិ និរយេ បច្ចិត្វា តស្សេវ កម្មស្ស-វិបាកាវសេសេន ឯវរូបំ អត្តភាវប្បដិលាភំ បដិសំវេ-ទេតិ ។ សច្ចំ ភិក្ខវេ មោគ្គល្លានោ អាហ អនាបត្តិ



ទើបពោលទោស តិះដៀល បន្តុះបង្អាប់ថា ព្រះមហាមោគ្គល្លានដ៏មានអាយុ ពោលអួតឧត្តរិមនុស្សធម្ម ។ គ្រានោះ ព្រះដ៏មានព្រះភាគត្រាស់ហៅភិក្ខុទាំងឡាយមក ហើយត្រាស់ប្រាប់ថា ម្នាលភិក្ខុទាំងឡាយ សាវកទាំងឡាយមានចក្ខុកើតព្រមហើយ ម្នាលភិក្ខុទាំងឡាយ សាវកទាំងឡាយមានញាណកើតព្រមហើយ ព្រោះហេតុថា សាវកនឹងដឹងក្ដីនឹងឃើញប្លែកបែបនេះ ឬថានឹងធ្វើរឿងប្លែកបែបនេះឲ្យជាបន្ទាល់ (របស់តថាគត) ម្នាលភិក្ខុទាំងឡាយ សត្វនោះតថាគតបានឃើញពីក្នុងកាលមុនរៀងមកហើយ ប៉ុន្តែតថាគតមិនបានសំដែង ព្រោះថា បើតថាគតសំដែងទៅ ពពួកជនដទៃមិនជឿ (ពាក្យ) តថាគត ពពួកជនណាដែលមិនជឿតថាគត សេចក្ដីដែលមិនជឿនោះនឹងនាំឲ្យខាតប្រយោជន៍ នាំឲ្យបានសេចក្ដីទុក្ខអស់កាលយូរអង្វែងដល់ពពួកជនទាំងនោះ ម្នាលភិក្ខុទាំងឡាយ សត្វនុ៎ះ (កាលពីដើម) ជាអ្នកពិឃាតគោ ក្នុងក្រុងរាជគ្រឹះនេះឯង ដោយកម្មវិបាកនោះ អ្នកពិឃាតគោនោះទៅកើតនៅក្នុងនរកអស់ឆ្នាំដ៏ច្រើន គឺអស់រយពាន់-សែនឆ្នាំដ៏ច្រើន ដោយសេសសល់នៃកម្មវិបាកនោះ ក៏ត្រឡប់មកទទួលផលគឺត្រឡប់បាននូវអត្តភាពបែបនេះឯង ។ ម្នាលភិក្ខុទាំងឡាយ មោគ្គល្លានពោលពាក្យពិត ម្នាលភិក្ខុទាំងឡាយ មោគ្គល្លានមិនត្រូវអាបត្តិ

សត្តោ ឥមស្មឹយេវ រាជគហេ ឱរព្ភិកោ អហោសិ ។ បេ ។ ឥធាហំ អាវុសោ គិជ្ឈកូដា បព្ពតា ឱរោហន្តោ អទ្ទសំ អសិលោមំ បុរិសំ វេហាសំ គច្ឆន្តំ តស្ស តេ អសី ឧប្បតិត្វា ឧប្បតិត្វា តស្សេវ កាយេ និបតន្តិ ស្វាស្សុទំ អដ្ដស្សរំ ករោតិ ។ បេ ។ ឯសោ ភិក្ខវេ សត្តោ ឥមស្មឹយេវ រាជគហេ សូករិកោ អហោសិ ។ បេ ។ ឥធាហំ អាវុសោ គិជ្ឈកូដា បព្ពតា ឱរោហន្តោ អទ្ទសំ សត្តិលោមំ បុរិសំ វេហាសំ គច្ឆន្តំ តស្ស តា សត្តិយោ ឧប្បតិត្វា ឧប្បតិត្វា តស្សេវ កាយេ និបតន្តិ ស្វាស្សុទំ អដ្ដស្សរំ ករោតិ ។ បេ ។ ឯសោ ភិក្ខវេ សត្តោ ឥមស្មឹយេវ រាជគហេ មាគវិកោ អហោសិ ។ បេ ។ ឥធាហំ អាវុសោ គិជ្ឈកូដា បព្ពតា ឱរោហន្តោ អទ្ទសំ ឧសុលោមំ បុរិសំ វេហាសំ



ទាំងឡាយ សត្វនុ៎ះ (កាលពីដើម) ជាអ្នកសម្លាប់សត្វចៀម ក្នុងក្រុងរាជគ្រឹះនេះឯង ។ បេ ។ ម្នាលអាវុសោទាំងឡាយ ថ្ងៃនេះ ខ្ញុំកាលដែលចុះអំពីភ្នំគិជ្ឈកូដ បានឃើញបុរសដែលកើតជាអសិលោមប្រេត[1] កំពុងតែអណ្តែតទៅឯអាកាស ដាវទាំងឡាយរបស់ប្រេតនោះអណ្តែតខ្ពស់ឡើងៗ ហើយធ្លាក់មកចាក់ត្រូវចំកាយនៃប្រេតនោះឯង អសិលោមប្រេតនោះចេះតែស្រែកថ្ងូរ ។ បេ ។ ម្នាលភិក្ខុទាំងឡាយ សត្វនុ៎ះ (កាលពីដើម) ជាអ្នកពិឃាតជ្រូកចិញ្ចឹមជីវិត ក្នុងក្រុងរាជគ្រឹះនេះឯង ។ បេ ។ ម្នាលអាវុសោទាំងឡាយ ថ្ងៃនេះ ខ្ញុំកាលដែលចុះអំពីភ្នំគិជ្ឈកូដ បានឃើញបុរសដែលកើតជាសត្តិលោមប្រេត[2] កំពុងតែអណ្តែតទៅឯអាកាស លំពែងទាំងឡាយរបស់ប្រេតនោះអណ្តែតខ្ពស់ឡើងៗ ហើយធ្លាក់មកចាក់ត្រូវចំកាយនៃប្រេតនោះឯង សត្តិលោមប្រេតនោះចេះតែស្រែកថ្ងូរ ។ បេ ។ ម្នាលភិក្ខុទាំងឡាយ សត្វនុ៎ះ (កាលពីដើម) ជាព្រានម្រឹគ ក្នុងក្រុងរាជគ្រឹះនេះឯង ។ បេ ។ ម្នាលអាវុសោទាំងឡាយ ថ្ងៃនេះ ខ្ញុំកាលដែលចុះអំពីភ្នំគិជ្ឈកូដ បានឃើញបុរសដែលកើតជាឧសុលោម-

១ ប្រេតមានដាវដោតជាប់នឹងរាងកាយខ្លួនជារោម ។ ២ ប្រេតមានលំពែងដោតជាប់នឹងរាងកាយខ្លួនជារោម ។

គច្ឆន្តំ តស្ស តេ ឧសូ ឧប្បតិត្វា ឧប្បតិត្វា តស្សេវ កាយេ និបតន្តិ សោ សុទំ អដ្ដស្សរំ ករោតិ ។ បេ ។ ឯសោ ភិក្ខវេ សត្តោ ឥមស្មិំយេវ រាជគហេ កា-រណិកោ អហោសិ ។ បេ ។ ឥធាហំ អាវុសោ គិជ្ឈកូដា បព្វតា ឱរោហន្តោ អទ្ទសំ សូចិលោមំ បុរិសំ វេហាសំ គច្ឆន្តំ តស្ស តា សូចិយោ ឧប្បតិត្វា ឧប្បតិត្វា តស្សេវ កាយេ និបតន្តិ សោ សុទំ អដ្ដស្សរំ ករោតិ ។ បេ ។ ឯសោ ភិក្ខវេ សត្តោ ឥមស្មិំយេវ រាជគហេ សារថិ អហោសិ ។ បេ ។ ឥធាហំ អាវុសោ គិជ្ឈកូដា បព្វតា ឱរោហន្តោ អទ្ទសំ សូចិលោមំ បុរិសំ វេហាសំ គច្ឆន្តំ តស្ស តា សូចិយោ សីសេ បវិសិត្វា មុខតោ និក្ខមន្តិ មុខេ បវិសិត្វា ឧរតោ និក្ខមន្តិ



ប្រេត[១] កំពុងតែអណ្តែតទៅឯអាកាស ព្រួញទាំងឡាយរបស់ប្រេតនោះអណ្តែតខ្ពស់ឡើង ៗ ហើយធ្លាក់មកដោតជាប់ចុះត្រង់កាយនៃប្រេតនោះឯង ឧសុលោមប្រេតនោះរេះតែស្រែកថ្ងូរ ។ បេ ។ ម្នាលភិក្ខុទាំងឡាយ សត្វនុ៎ះ (កាលពីដើម) ជាពេជ្ឈឃាត[២] ក្នុងក្រុងរាជគ្រឹះនេះឯង ។ បេ ។ ម្នាលអាវុសោលក្ខណៈ ថ្ងៃនេះ ខ្ញុំកាលដែលចុះអំពីភ្នំគិជ្ឈកូដ បានឃើញបុរសដែលកើតជាសូចិលោមប្រេត[៣] កំពុងតែអណ្តែតទៅឯអាកាស ម្ជុលទាំងឡាយរបស់ប្រេតនោះ អណ្តែតខ្ពស់ឡើង ៗ ហើយធ្លាក់មកដោតជាប់ទីកាយរបស់ប្រេតនោះឯង សូចិលោមប្រេតនោះរេះតែស្រែកថ្ងូរ ។ បេ ។ ម្នាលភិក្ខុទាំងឡាយ សត្វនុ៎ះ (កាលពីដើម) ជានាយសារថី ក្នុងក្រុងរាជគ្រឹះនេះឯង ។ បេ ។ ម្នាលអាវុសោលក្ខណៈ ថ្ងៃនេះ ខ្ញុំកាលដែលចុះអំពីភ្នំគិជ្ឈកូដ បានឃើញបុរសដែលកើតជាសូចិ-លោមប្រេត[៤] កំពុងតែអណ្តែតទៅឯអាកាស ដែកស្រួចទាំងឡាយរបស់ប្រេតនោះដោតចូលទៅតាមក្បាល ហើយធ្លាយចេញមកតាមមាត់ ដោតចូលទៅតាមមាត់ហើយធ្លាយចេញមកតាមទ្រូង ដោតចូលទៅតាម

---

១ ប្រេតមានព្រួញដោតជាប់នឹងកាយដូចជារោម ។ ២ ជាពេជ្ឈឃាតបាញ់មនុស្សទោសដោយព្រួញ ។ ៣ ប្រេតមានម្ជុលដោតជាប់នឹងកាយដូចជារោម ។ ៤ ប្រេតមានដែកស្រួចចាក់ទ្រស់ច្រើនប្រាកដនៅកាយដូចជារោម ។

វិហរន្តិ ញាណភូតា វត ភិក្ខវេ សាវកា វិហរន្តិ យត្រ ហិ នាម សាវកោ ឯវរូបំ ញស្សតិ វា ទក្ខតិ វា សក្ខឹ វា ករិស្សតិ ។ បុព្វេវ មេ សោ ភិក្ខវេ សាមណេរោ ទិដ្ឋោ អហោសិ អបិ ចាហំ ន ព្យាកាសឹ អហញ្ចេតំ ព្យាករេយ្យំ បរេ ច មេ ន សទ្ទហេយ្យុំ យេ មេ ន សទ្ទហេយ្យុំ តេសន្តំ អស្ស ទីឃរត្តំ អហិតាយ ទុក្ខាយ ។ ឯសោ ភិក្ខវេ សាមណេរោ កស្សបស្ស សម្មាសម្ពុទ្ធស្ស បាវចនេ បាបសាមណេរោ អហោសិ ។ សោ តស្ស កម្មស្ស វិបាកេន ពហូនិ វស្សានិ ពហូនិ វស្សសតានិ ពហូនិ វស្សសហស្សានិ ពហូនិ វស្សសតសហស្សានិ និរយេ បច្ចិត្វា តស្សេវ កម្មស្ស វិបាកាវសេសេន ឯវរូបំ អត្តភាវបដិលាភំ បដិសំវេទេតិ ។ សច្ចំ ភិក្ខវេ មោគ្គល្លានោ អាហ ។ អនាបត្តិ ភិក្ខវេ មោគ្គល្លា-នស្សាតិ ។



បានចក្ខុកើតកើតហើយ ម្នាលភិក្ខុទាំងឡាយ សាវកទាំងឡាយមានញាណកើតកើតហើយ ព្រោះហេតុថា សាវកនឹងដឹងឬនឹងឃើញសាម-ណេរបែបនេះ ឬថានឹងធ្វើនូវសាមណេរបែបនេះឲ្យជាក់ច្បាស់ ម្នាលភិក្ខុទាំងឡាយ សាមណេរនោះ តថាគតបានឃើញតាំងពីកាលមុនរួចមកហើយដែរ តែតថាគតមិនបានសំដែងប្រាប់ ព្រោះថាបើតថាគតសំដែងប្រាប់ទៅ ជនទាំងឡាយឯទៀតនឹងមិនជឿ ពួកជនណាដែលមិនជឿពាក្យតថាគត សេចក្តីដែលមិនជឿនោះ នឹងតាំងនៅដើម្បីមិនមែនជាប្រយោជន៍ នឹងតាំងនៅដើម្បីសេចក្តីទុក្ខអស់កាលយូរអង្វែងដល់ជនទាំងនោះ ម្នាលភិក្ខុទាំងឡាយ សាមណេរនុ៎ះជាសាមណេរអាក្រក់ ក្នុងសាសនាព្រះសម្មាសម្ពុទ្ធព្រះនាមកស្សប ដោយកម្មនោះ សាមណេរនោះនៅក្នុងនរកអស់ឆ្នាំជាច្រើន គឺច្រើនរយ-ពាន់-សែនឆ្នាំជាច្រើន ដោយសំណល់នៃកម្មនោះ ទើបបានមកសោយផលកម្មដែលត្រឡប់បាននូវអត្តភាពបែបនេះ ម្នាលភិក្ខុទាំងឡាយ មោគ្គល្លាននិយាយពាក្យពិត ម្នាលភិក្ខុទាំងឡាយ មោគ្គល្លានមិនត្រូវអាបត្តិទេ ។

[៤៧៦] អថខោ អាយស្មា មហាមោគ្គល្លានោ ភិក្ខូ អាមន្តេសិ យាយំ អាវុសោ តបោទា សន្ទតិ សោ ទហោ អច្ឆោទកោ សីតោទកោ សាតោទកោ សេតោទកោ សុបតិត្ថោ រមណីយោ បហូតមច្ឆកច្ឆបោ ចក្កមត្តានិ ច បទុមានិ បុប្ផន្តិ អថ ច បនាយំ តបោទា កុថិតា(១) សន្ទតីតិ ។ ភិក្ខូ ឧជ្ឈាយន្តិ ខិយ្យន្តិ វិបាចេន្តិ កថំ ហិ នាម អាយស្មា មហាមោគ្គល្លានោ ឯវំ វក្ខតិ យាយំ អាវុសោ តបោទា សន្ទតិ សោ ទហោ អច្ឆោទកោ សីតោទកោ សាតោទកោ សេតោទកោ សុបតិត្ថោ រមណីយោ បហូតមច្ឆកច្ឆបោ ចក្កមត្តានិ ច បទុមានិ បុប្ផន្តិ អថ ច បនាយំ តបោទា កុថិតា(២) សន្ទតីតិ ឧត្តរិមនុស្សធម្មំ អាយស្មា មហាមោគ្គល្លានោ ឧល្លបតីតិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ យាយំ ភិក្ខវេ តបោទា សន្ទតិ សោ ទហោ អច្ឆោទកោ សីតោទកោ សាតោទកោ សេតោទកោ សុបតិត្ថោ រមណីយោ បហូតមច្ឆកច្ឆបោ ចក្កមត្តានិ ច បទុមានិ បុប្ផន្តិ

១-២ [illegible] កុថិតាតិ លិខិតំ ។



[៤៧៦] គ្រានោះ ព្រះមហាមោគ្គល្លានដ៏មានអាយុ ហៅភិក្ខុទាំងឡាយមកហើយនិយាយប្រាប់ថា ម្នាលអាវុសោទាំងឡាយ ស្ទឹងតបោទានេះហូរមកអំពីអន្លង់ទឹកណា អន្លង់នោះមានទឹកថ្លា ទឹកត្រជាក់ ទឹកឆ្ងាញ់ ទឹកស្អាត មានកំពង់ដ៏ល្អ គួរជាទីរីករាយ មានត្រីនិងអណ្តើកដ៏ច្រើន មានផ្កាឈូកប៉ុនៗ កង់ (រទេះ) រីកស្គុះស្គាយ តែថាស្ទឹងតបោទានេះមានទឹកក្តៅហូរមក ។ ភិក្ខុទាំងឡាយក៏ពោលទោស តិះដៀល បន្តុះបង្អាប់ថា ហេតុដូចម្តេច ព្រះមហាមោគ្គល្លានពោលយ៉ាងនេះថា ម្នាលអាវុសោទាំងឡាយ ស្ទឹងតបោទានេះហូរមកអំពីអន្លង់ទឹកណា អន្លង់នោះ មានទឹកថ្លា ទឹកត្រជាក់ ទឹកឆ្ងាញ់ ទឹកស្អាត មានកំពង់ដ៏ល្អ គួរជាទីរីករាយ មានត្រីនិងអណ្តើកដ៏ច្រើន មានផ្កាឈូកប៉ុនៗ កង់ (រទេះ) រីកស្គុះស្គាយ តែថាស្ទឹងតបោទានេះមានទឹកក្តៅហូរមក ព្រះមហាមោគ្គល្លានដ៏មានអាយុ ពោលអួតឧត្តរិមនុស្សធម្ម (ទេដឹង) ។ លុះក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុទាំងឡាយ ស្ទឹងតបោទានេះហូរមកអំពីអន្លង់ទឹកណា អន្លង់នោះ មានទឹកថ្លា ទឹកត្រជាក់ ទឹកឆ្ងាញ់ ទឹកស្អាត មានកំពង់ដ៏ល្អ គួរជាទីរីករាយ មានត្រីនិងអណ្តើកដ៏ច្រើន មានផ្កាឈូកប៉ុនៗ កង់ (រទេះ) រីក

ភិក្ខូ ឧជ្ឈាយន្តិ ខីយន្តិ វិបាចេន្តិ កថំ ហិ នាម អាយស្មា មហាមោគ្គល្លានោ ឯវំ វក្ខតិ ឥធាហំ អាវុសោ សប្បិនិកាយ នទិយា តីរេ អានេញ្ជំ សមាធិំ សមាបន្នោ នាគានំ ឱគយ្ហ ឧត្តរន្តានំ កោញ្ចំ ករោន្តានំ សទ្ទំ អស្សោសិន្តិ ឧត្តរិមនុស្សធម្មំ អាយស្មា មហាមោគ្គល្លានោ ឧល្លបតីតិ ។ ភគវតោ ឯតមត្ថំ អារោចេសុំ ។ អត្ថេសោ ភិក្ខវេ សមាធិ សោ ច ខោ អបរិសុទ្ធោ សច្ចំ ភិក្ខវេ មោគ្គល្លានោ អាហ អនាបត្តិ ភិក្ខវេ មោគ្គល្លានស្សាតិ ។

[២៥៥] អថខោ អាយស្មា សោភិតោ ភិក្ខូ អាមន្តេសិ អហំ អាវុសោ បញ្ច កប្បសតានិ អនុស្សរាមីតិ ។ ភិក្ខូ ឧជ្ឈាយន្តិ ខីយន្តិ វិបាចេន្តិ កថំ ហិ នាម អាយស្មា សោភិតោ ឯវំ វក្ខតិ អហំ អាវុសោ បញ្ច កប្បសតានិ អនុស្សរាមីតិ ឧត្តរិមនុស្សធម្មំ អាយស្មា សោភិតោ ឧល្លបតីតិ ។ ភគវតោ



ភិក្ខុទាំងឡាយក៏ពោលទោស តិះដៀល បន្តុះបង្អាប់ថា ហេតុអ្វី បានជាព្រះមហាមោគ្គល្លានដ៏មានអាយុពោលយ៉ាងនេះថា ម្នាលអាវុសោទាំងឡាយ ថ្ងៃនេះ ខ្ញុំបានចូលសមាធិឥតមានកំរើកប្រែប្រួល ទៀបឆ្នេរស្ទឹងសប្បិនិកា បានឮសូរសៀងដំរីទាំងឡាយ ដែលកំពុងចុះមុជឡើងទៅស្រែកបន្លឺកោញ្ចនាទ ព្រះមហាមោគ្គល្លានដ៏មានអាយុ ពោលអួតឧត្តរិមនុស្សធម្ម (ទេតើ) ។ ភិក្ខុទាំងនោះក៏ក្រាបទូលសេចក្តីនុ៎ះចំពោះព្រះដ៏មានព្រះភាគ ។ ព្រះអង្គត្រាស់ថា ម្នាលភិក្ខុទាំងឡាយ សមាធិនុ៎ះមាន ប៉ុន្តែសមាធិនោះមិនបរិសុទ្ធ ម្នាលភិក្ខុទាំងឡាយ មោគ្គល្លានពោលនូវពាក្យពិត ម្នាលភិក្ខុទាំងឡាយ មោគ្គល្លានមិនត្រូវអាបត្តិទេ ។

[២៥៥] គ្រានោះ ព្រះសោភិតត្ថេរដ៏មានអាយុ ហៅភិក្ខុទាំងឡាយមកហើយនិយាយប្រាប់ថា ម្នាលអាវុសោទាំងឡាយ ខ្ញុំរលឹកជាតិបានប្រមាណ ៥០០ កប្ប ។ ភិក្ខុទាំងឡាយក៏ពោលទោស តិះដៀល បន្តុះបង្អាប់ថា ហេតុអ្វី បានជាព្រះសោភិតត្ថេរដ៏មានអាយុពោលយ៉ាងនេះថា ម្នាលអាវុសោទាំងឡាយ ខ្ញុំរលឹកជាតិបានប្រមាណ ៥០០ កប្ប ព្រះសោភិតត្ថេរដ៏មានអាយុ ពោលអួតឧត្តរិមនុស្សធម្ម (ទេតើ) ។

ទុតិយម្បិ បុច្ឆាមិ កច្ចិត្ថ បរិសុទ្ធា តតិយម្បិ បុច្ឆាមិ កច្ចិត្ថ បរិសុទ្ធា បរិសុទ្ធេត្ថាយស្មន្តោ តស្មា តុណ្ហី ឯវមេតំ ធារយាមីតិ ។

បារាជិកកណ្ឌំ និដ្ឋិតំ ។

## តស្សុទ្ទានំ

មេថុនាទិន្នាទានញ្ច មនុស្សវិគ្គហុត្តរិ

បារាជិកានិ ចត្តារិ ឆេជ្ជវត្ថូ អសំសយាតិ ។

---



បរិសុទ្ធហើយឬ ខ្ញុំព្រះករុណា សូមសួរគំរប់ ៣ ដងទៀត លោកទាំងនី ក្លាយជាអ្នកបរិសុទ្ធហើយឬ លោកដ៏មានអាយុទាំងនីក្លាយជាអ្នកបរិសុទ្ធ ហើយក្នុងបារាជិកាបត្តិទាំង ៤ នុ៎ះ ព្រោះហេតុដូច្នោះ បានជាស្ងៀម ។ ខ្ញុំព្រះករុណាដឹងថា លោកទាំងឡាយបរិសុទ្ធហើយ ដោយហេតុដែលស្ងៀមយ៉ាងនេះ ។

បារាជិកកណ្ឌ ចប់ ។

## បំព្រួញសិក្ខាបទរបស់បារាជិកកណ្ឌនោះ

បារាជិកសិក្ខាបទទាំង ៤ គឺសេពមេថុន ១ លួចទ្រព្យគេ ១ សម្លាប់មនុស្ស ១ អួតឧត្តរិមនុស្សធម្ម ១ ហៅថាឆេជ្ជវត្ថុ (វត្ថុដាច់ចាកភិក្ខុភាវៈ) មិនត្រូវសង្ស័យឡើយ ។

---

# សន្ទស្សន៍ប្រជុំមាតិកា

សៀវភៅនេះ ត្រូវបានបោះពុម្ពឡើងវិញ ដោយប្រាក់ជំនួយរបស់
អ្នកមានខាងក្រោមនេះ :

Printing costs were met through the gift of

Wat, Sotoshu Fukusenji Temple
The Rev. Seikyo Muchaku · Toki Muchaku
292 Hitokuwada, Tako-Machi, Katori-Gun, Chiba Prefecture Japan

この本は次の方によって復刻されました。

宗教法人 曹洞宗 福泉寺 住職 無着成恭・無着とき
〒289-22 日本国千葉県香取郡多古町一鍬田292
☎0479-75-0894


ព្រះត្រៃបិដក ភាគទី ១១០ * អភិធម្មបិដក *
ការផ្សាយរបស់ពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ
ការបោះពុម្ពជាថ្មីឡើងវិញ របស់សមាគមជំនួយដល់ការបោះពុម្ពព្រះត្រៃបិដកឡើងវិញ
បោះពុម្ព ថ្ងៃទី ១០ កក្កដា ឆ្នាំ ១៩៩៤
សហប្រតិបត្តិការរៀបរៀង និងបោះពុម្ពនៅប្រទេសជប៉ុន

TRIPITAKA VOL. 1 (of 110 volumes total)
"VINAYA PITAKA"
Published by the Buddhist Institute, Phnom Penh
Reproduced with the kind cooperation of the
TRIPITAKA PUBLISHING COMMITTEE
First edition December 6, 1994
Printed in Japan by Hirosaki Sogo Printing Ltd.

トリピタカ（南伝大蔵経）全110巻・第1巻ヴィナヤピタカ（律部）
発　行：プノンペン仏教研究所
復刻救援：カンボジア版トリピタカ（南伝大蔵経）復刻救援委員会
発　行：1994年12月6日
印刷・製本／弘前相互印刷株式会社
制作にあたり弘前相互印刷株式会社の多大な協力を得ました。